# អត្ថន័យនៃ
# ឥស្លាម
## មូលដ្ឋានគ្រឹះ និងគោលការណ៍




## أصوله ومبادئه


និពន្ធដោយៈ

បណ្ឌិត មូហាំម៉ាត់ ពិន អាប់ឌុលឡោះ ពិន សឡេះ ពិន អើសសាហ៊ីម



# ក្នុងព្រះនាមអល់ឡោះមហាមេត្តា មហាករុណា អារម្ភកថា

ការសរសើរទាំងឡាយសម្រាប់អល់ឡោះជាម្ចាស់ដែលទ្រង់បាន បញ្ជូនអ្នកនាំសារពាំនាំមកជាមួយនូវការចង្អុលបង្ហាញ និងសាសនាដ៏ពិតប្រាកដ។ ការសរសើរសម្រាប់អល់ឡោះជាម្ចាស់ដែលទ្រង់បាន បង្កើតពួកយើងក្នុងចំណោមពួកអ្នកដើរតាមអ្នកនាំសារមូហាំម៉ាត់។ ការសរសើរសម្រាប់អល់ឡោះជាម្ចាស់ដែលទ្រង់បានប្រទានពរជ័យ ដល់ពួកយើង បង្កើតពួកយើងជាពួកអ្នកដែលប្រកាន់ខ្ជាប់នូវការចង្អុលបង្ហាញ ហើយជាអ្នកដែលអំពាវនាវមនុស្សលោកទៅកាន់មាគ៌ាដ៏ត្រឹមត្រូវរបស់ទ្រង់។

សូមសច្ចាថា គ្មានព្រះជាម្ចាស់ដែលត្រូវគោរពសក្ការៈយ៉ាងពិតប្រាកដ លើកលែងតែអល់ឡោះជាម្ចាស់មួយគត់។ ទ្រង់គ្មានអ្នកសហការ។ ទ្រង់ជាព្រះរបស់មនុស្សជំនាន់ដើមនិងមនុស្សជំនាន់ក្រោយ។ ទ្រង់ជាព្រះថែរក្សាមេឃ និងផែនដី។ មនុស្សល្អនិងមនុស្សអាក្រក់ឱនលំទោនចំពោះទ្រង់ ហើយចក្ខុទាំងឡាយជាសាក្សីសម្រាប់ភាពយុត្តិធម៌ និងក្តីមេត្តាករុណារបស់ទ្រង់។ទ្រង់ប្រទានការចង្អុលបង្ហាញចំពោះអ្នកដែលទ្រង់សព្វព្រះទ័យ ទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ។ ទ្រង់បញ្ចៀសពីមាគ៌ារបស់ទ្រង់ប្រកបដោយភាពយុត្តិធម៌ ចំពោះជនដែលសក្តិសមនឹងទទួលនូវទារុណកម្មដ៏អមតៈ។ សូមសច្ចាថាមូហាំម៉ាត់ជាបម្រើនិងជាអ្នកនាំសាររបស់អល់ឡោះ(សូមសន្តិ ភាពកើតមានចំពោះលោក)។ គាត់បានពលីជីវិតក្នុងការតស៊ូ អត់ធ្មត់ និងអំពាវនាវមនុស្ស

លោកទៅកាន់មាគ៌ារបស់ព្រះជាម្ចាស់នៅគ្រប់ទិសទី។ គាត់បានអំពាវនាវមនុស្ស ឱ្យមករកជ័យជំនះ និងការតស៊ូ។ អល់ឡោះជាម្ចាស់ទ្រង់បានប្រទានលក្ខណៈពិសេសដ៏ឧត្តុង្គឧត្តមដល់គាត់ដែលមិនអាចពណ៌នាបាន។ ទ្រង់បានរក្សាច្បាប់សាសនារបស់ទ្រង់ ឱ្យឋិតថេរគង់វង្សរហូតដល់ថ្ងៃបរលោក និងពួកអ្នកអំពាវនាវដែលកាន់ទង់ជ័យរបស់លោក(មូហាំម៉ាត់)រហូតដល់ថ្ងៃអវសាននៃលោកីយ៍។ នៅតែមានមនុស្សមួយក្រុមនៃពួកអ្នកមានជំនឿ ដែលដើរតាមសច្ចភាពបន្តនូវការគាំទ្រ។ គ្មាននរណាម្នាក់អាចបង្កគ្រោះថ្នាក់ បង្កភាពអាម៉ាស់ និងប្រឆាំងនឹងពួកគេ ខណៈដែលពួកគេប្រកាន់ខ្ជាប់នូវសច្ចភាព ប្រតិបត្តិនូវកេរដំណែលរបស់អ្នកនាំសារមូហាំម៉ាត់(សូមសន្តិភាពកើតមានចំពោះលោក)។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ قُلۡ هَٰذِهِۦ سَبِيلِيٓ أَدۡعُوٓاْ إِلَى ٱللَّهِۚ عَلَىٰ بَصِيرَةٍ أَنَا۠ وَمَنِ ٱتَّبَعَنِيۖ وَسُبۡحَٰنَ ٱللَّهِ وَمَآ أَنَا۠ مِنَ ٱلۡمُشۡرِكِينَ ١٠٨ ﴾ يوسف: ١٠٨

មានន័យថា : *នែ!មូហាំម៉ាត់ ចូរប្រាប់ពួកគេថា :« នេះជាមាគ៌ារបស់ខ្ញុំ។ ខ្ញុំអំពាវនាវទៅរកការគោរពសក្ការៈចំពោះអល់ឡោះដោយមានភស្តុតាងច្បាស់លាស់។ រូបខ្ញុំនិងអ្នកដែលតាមខ្ញុំ»។*

បេសកម្មរបស់លោកមូហាំម៉ាត់(សូមសន្តិភាពកើតមានចំពោះលោក) គឺអំពាវនាវអ្នកដែលវង្វេងទៅរកការចង្អុលបង្ហាញ ហើយដាស់តឿនពួកគេឱ្យមានការប្រុងប្រយ័ត្នពីភាពវិនាសអន្តរាយ។ អប់រំមនុស្សឱ្យស្រលាញ់ពេញចិត្តចំពោះអ្វីដែលជាកម្មសិទ្ធិរបស់អល់ឡោះជាម្ចាស់។ កុំឱ្យពួកគេធ្វើដូចពួកម្ចាស់គម្ពីរដែលទ្រង់បានសន្យានឹងពួក

គេ ហើយពួកគេបែរជាក្បត់កិច្ចសន្យា ធ្វើជាមិនដឹង មិនឮ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَإِذْ أَخَذَ ٱللَّهُ مِيثَٰقَ ٱلَّذِينَ أُوتُواْ ٱلْكِتَٰبَ لَتُبَيِّنُنَّهُۥ لِلنَّاسِ وَلَا تَكْتُمُونَهُۥ فَنَبَذُوهُ وَرَآءَ ظُهُورِهِمْ وَٱشْتَرَوْاْ بِهِۦ ثَمَنًا قَلِيلًا ۖ فَبِئْسَ مَا يَشْتَرُونَ ﴿١٨٧﴾ ﴾ سورة آل عمران: ١٨٧

មានន័យថា : *«នែ មូហាំម៉ាត់! ចូរអ្នករំឭក ខណៈដែលអល់ឡោះជាម្ចាស់បានសន្យានឹងពួកអ្នកដែលទ្រង់បានប្រទានគម្ពីរដល់ពួកគេ(ពួកជ្វីហ្វនិងគ្រីស្ទាន)»។* ពួកជ្វីហ្វទទួលបានគម្ពីរតាវរ៉ាតនិងពួកគ្រីស្ទានទទួលបានគម្ពីរអ៊ិនជីល ដើម្បីពួកគេអនុវត្តតាមគម្ពីរទាំងពីរ ព្រមទាំងបកស្រាយបញ្ជាក់ប្រាប់មនុស្សពីខ្លឹមសារក្នុងគម្ពីរទាំងនេះ។ ពួកគេពុំត្រូវលាក់បាំងរឿងនេះឡើយ។ តែពួកគេបានបោះបង់កិច្ចសន្យានេះ ដាក់ពីក្រោយខ្នងរបស់ពួកគេ។ ពួកគេប្តូរកិច្ចសន្យានេះនឹងផលប្រយោជន៏បន្តិចបន្តួច។ នេះជាការជួញដូរដ៏អាក្រក់ជាទីបំផុត។

ជាបឋមអ្នកដែលធ្វើការបោះពុម្ពផ្សាយសៀវភៅឥស្លាមនិងការបកប្រែសៀវភៅទាំងនេះនឹងដឹងអំពីទំហំនៃតម្រូវការសៀវភៅសម្រាប់អំពាវនាវពួកអ្នកមិនមែនមូស្លីម ទៅកាន់សាសនាឥស្លាម។ សៀវភៅដែលបង្ហាញអំពីឥស្លាមអាចមានច្រើន ទោះដោយសង្ខេប ឬពិស្តារ។ ក៏ប៉ុន្តែសៀវភៅទាំងនោះអាចនឹងមិនឆ្លើយតបនឹងល័ក្ខខ័ណ្ឌដែលគេទាមទារក្នុងការអំពាវបែបនេះទេ ពីព្រោះសៀវភៅខ្លះរៀបចំសម្រាប់ពួកមូស្លីម ពុំមែនក្នុងបំណងសម្រាប់ពន្យល់ដល់ពួកអ្នកមិនមែនមូស្លីមឡើយ។សៀវភៅខ្លះទៀតនិយាយពិស្តារពីបញ្ហាផ្សេងៗនៃការគោរពសក្ការៈដែលមិនសមស្របសម្រាប់ពួកអ្នកមិនមែនមូស្លីម។

ជូនកាលសៀវភៅខ្លះ និយាយពីប្រធានបទដែលមិនអាចដកស្រង់យកជាប្រយោជន៍អ្វីបន្តិចសោះឡើយ។

ជាការពិតណាស់ នាយកដ្ឋានបោះពុម្ពផ្សាយនៃក្រសួងកិច្ចការឥស្លាម សាសនធម៌ និងការផ្សព្វផ្សាយបានយកចិត្តទុកដាក់ចំពោះកិច្ចការនេះ តាំងពីយូរណាស់មកហើយ។ ក៏ប៉ុន្តែនៅពុំទាន់មានការឆ្លើយតបនឹងតម្រូវការរបស់ក្រសួងនៅឡើយ ហើយនាយកដ្ឋានបោះពុម្ពផ្សាយក៏មិនបានសម្រួលដល់ពួកយើងខ្ញុំក្នុងការចុះកិច្ចសន្យាដើម្បីរៀបចំសៀវភៅនេះឡើង។ម៉្យាងទៀត យើងបានបង្ហាញការងារនេះដល់អ្នកជំនាញមួយចំនួន។ ក៏ប៉ុន្តែមានឧបសគ្គជាច្រើន ធ្វើឱ្យរាំងស្ទះដល់ការងារនេះ។ ប្រហែលរឿងនេះដោយសារតែមានអំពើបាបច្រើនពេក និងមានការធ្វេសប្រហែសក្នុងការប្រណិប័តន៍ចំពោះអល់ឡោះ។

ពីមួយថ្ងៃទៅមួយថ្ងៃ មានសៀវភៅមកដល់ពួកយើងខ្ញុំ ពីពួកអ្នកចូលឥស្លាមថ្មីៗ ឬមជ្ឈមណ្ឌលឥស្លាមបានស្នើសុំឱ្យខាងយើងខ្ញុំផ្តល់ជាសៀវភៅសម្រាប់បកប្រែដែលសមស្របសម្រាប់អ្នកមិនមែនឥស្លាម។ យើងខ្ញុំក៏បានក្រឡេកមើលគ្រប់ទីកន្លែង តែគ្មានឃើញសៀវភៅអ្វីគួរដាក់ជូនពួកគេបកប្រែសោះ។ ពួកយើងខ្ញុំមានអារម្មណ៍រសាប់រសល់នៅមិនសុខ ព្រោះដោយសារអសមត្ថភាព ក្នុងការផ្តល់ចំណេះដឹងអំពីច្បាប់របស់អល់ឡោះ តាមរយៈអត្ថបទសៀវភៅសង្ខេបខ្លីៗ។

បន្ទាប់មក ខ្ញុំយល់ថា ការពន្យារពេលពីមួយថ្ងៃទៅមួយថ្ងៃ ជាគុណវិបត្តិដែលមិនងាយនឹងផុតរលត់ ហើយក្តីសង្ឃឹមនិងការរង់ចាំអ្វីដែលគ្មានគឺជាអំពើល្ងង់ខ្លៅ។ ម៉្យាងទៀតយើងគ្មានលេសអ្វីនឹងបណ្តែ

តបណ្ដោយបែបនេះទៀតទេ។ ខ្ញុំក៏បានថ្វាយបង្គំបួងសួងសុំការសម្រេចពីអល់ឡោះជាម្ចាស់ សុំការគាំទ្រនិងសម្រេចជោគជ័យពីទ្រង់ក្នុងការសរសេរសៀវភៅដើម្បីបំពេញនូវភាពខ្វះចន្លោះនេះ ទោះវាជាការធ្វើបណ្ដោះអាសន្នក៏ដោយ។ ក្ដីស្រមៃរបស់យើងគង់នឹងបានសម្រេចដរាបណាយើងពេញចិត្ត ហើយខ្ញុំមិនហ៊ានអះអាងថា ខ្ញុំទទួលបានជោគជ័យចំពោះគោលបំណងរបស់ខ្ញុំនោះទេ។ ក៏ប៉ុន្ដែ ខ្ញុំនឹងព្យាយាមត្រួសត្រាយផ្លូវ ដើម្បីឱ្យអ្នកជំនាន់ក្រោយស្លាបនាផ្លូវនេះឱ្យកាន់តែល្អ។ ខ្ញុំជាអ្នកបណ្ដុះគ្រាប់ពូជ ហើយពួកគេជាអ្នកស្រោចទឹកឱ្យរីកលូតលាស់។

ខ្ញុំបានព្យាយាមតាមលទ្ធភាពក្នុងការបង្ហាញដោយសង្ខេបអំពីឥស្លាមក្នុងសៀវភៅនេះតាមរយៈការពន្យល់អំពីមូលដ្ឋានគ្រឹះ និងគោលការណ៍សំខាន់ៗក្នុងឥស្លាម រួមជាមួយបញ្ហាចាំបាច់មួយចំនួនដែលទាមទារការពន្យល់បកស្រាយបន្ថែម នៅពេលធ្វើការផ្សព្វផ្សាយអំពីឥស្លាម។

ក្នុងស្នាដៃនេះខ្ញុំបានលើកឡើងអំពីអត្ថបទទូទៅ ដូចជានិយាយអំពីដំណឹងបញ្ជូនមូអើស ទៅកាន់ប្រទេសយេមែន។ កាលនោះ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ទៅកាន់គាត់ថា :

**قال رسول الله صلى الله عليه وسلم : ( إنك تأتي قوما من أهل الكتاب فادعهم إلى شهادة أن لا إله إلا الله وأني رسول الله فإن هم أطاعوا لذلك فأعلمهم أن الله افترض عليهم خمس صلوات في كل يوم وليلة فإن هم أطاعوا لذلك فأعلمهم أن الله افترض عليهم صدقة تؤخذ من أغنيائهم فترد في فقرائهم ... ) صحيح مسلم.**

មានន័យថា : «*ប្រាកដណាស់ អ្នកនឹងទៅជួបមនុស្សមួយក្រុម ដែលជាអ្នកកាន់សាសនាគ្រឹស្ទាន។ ចូរអ្នកអំពាវនាវពួកគេទៅរកពាក្យសច្ចាថា គ្មានព្រះជាម្ចាស់ទេ លើកលែងតែអល់ឡោះ ហើយប្រាប់ថា ខ្ញុំជាអ្នកនាំសាររបស់អល់ឡោះ។ បើសិនជាពួកគេស្ដាប់តាមអ្នក ចូរប្រាប់ពួកគេថា អល់ឡោះបានបង្គាប់ពួកគេឱ្យថ្វាយបង្គំមួយថ្ងៃមួយយប់ប្រាំដង។ បើសិនជាពួកគេព្រមប្រតិបត្តិតាមអ្នក ចូរប្រាប់ពួកគេថា អល់ឡោះជាម្ចាស់បានដាក់កាតព្វកិច្ចលើពួកគេឱ្យបរិច្ចាគទ្រព្យសម្បត្តិ ដោយដកយកពីពួកអ្នកមាន ចែកជូនអ្នកទីទ័លក្រ.....*»។

យោងតាមសចក្ដីរាយការណ៍របស់លោកអ៊ូម៉ើរអាល់ខត្តបបាននិយាយថា :

**عمر بن الخطاب قال بينما نحن عند رسول الله صلى الله عليه وسلم ذات يوم إذ طلع علينا رجل شديد بياض الثياب شديد سواد الشعر لا يرى عليه أثر السفر ولا يعرفه منا أحد حتى جلس إلى النبي صلى الله عليه وسلم فاسند ركبتيه إلى ركبتيه ووضع كفيه على فخذيه وقال : ( يا محمد أخبرني عن الإسلام فقال رسول الله صلى الله عليه وسلم الإسلام أن تشهد أن لا إله إلا الله وأن محمدا رسول الله صلى الله عليه وسلم وتقيم الصلاة وتؤتي الزكاة وتصوم رمضان وتحج البيت إن استطعت إليه سبيلا قال صدقت قال فعجبنا له يسأله ويصدقه قال فأخبرني عن الإيمان قال أن تؤمن بالله وملائكته وكتبه ورسله واليوم الآخر وتؤمن بالقدر خيره وشره قال صدقت قال فأخبرني عن الإحسان قال أن تعبد الله كأنك تراه فإن لم تكن تراه فإنه يراك ... إلى أن قال لي يا عمر أتدري من السائل ؟ قلت الله ورسوله أعلم قال فإنه جبريل أتاكم يعلمكم دينكم ) صحيح مسلم.**

មានន័យថា : *«នៅថ្ងៃមួយ ខណៈដែលពួកយើងនៅជាមួយអ្នកនាំសាររបស់អល់ឡោះ ស្រាប់តែមានបុរសម្នាក់មកជួបពួកយើង។ គាត់ពាក់អាវពណ៌សក្បុស សក់ខ្មៅ ពុំមានសញ្ញាថាជាអ្នកធ្វើដំណើរទេ ហើយក៏គ្មាននរណាម្នាក់ស្គាល់គាត់ដែរ។ គាត់បានអង្គុយនៅមុខអ្នកនាំសាររបស់អល់ឡោះ យកក្បាលជង្គង់គាត់ទល់នឹងក្បាលជង្គង់របស់អ្នកនាំសារ។ ដាក់ដៃគាត់ទាំងពីរលើភ្លៅទាំងពីររបស់អ្នកនាំសារ ហើយសួរថា : «នែមូហាំម៉ាត់ សូមជួយប្រាប់ខ្ញុំអំពីឥស្លាមផង?»។ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា : «អ្នកត្រូវធ្វើសាក្សីថា គ្មានទេព្រះជាម្ចាស់ លើកលែងតែអល់ឡោះ ហើយអ្នកនាំសារមូហាំម៉ាត់ជាអ្នកនាំសាររបស់ទ្រង់ ត្រូវអនុវត្តការថ្វាយបង្គំ ការបរិច្ចាគទ្រព្យសម្បត្តិ ការបួសខែរ៉ម៉ាដន ការធ្វើធម្មយាត្រាហាជ្ជនៅវិហារកាក់ហ្ពះ បើសិនជាអ្នកមានលទ្ធភាព»។ ពេលនោះគាត់បាននិយាយថា :« អ្នកនិយាយត្រូវហើយ»។ អ៊ូម៉ើរនិយាយថា : «ពួកយើងឆ្ងល់មែនទែន គាត់សួរហើយគាត់ប្រាប់ថា អ្នកនាំសារនិយាយត្រូវ»។ គាត់បានសួរទៀតថា :«ចូរប្រាប់ខ្ញុំអំពីជំនឿ?»។ អ្នកនាំសារបានមានប្រសាសន៍ថា : «អ្នកត្រូវមានជំនឿចំពោះអល់ឡោះ ជឿថាមានពួកទេវតា ជឿថាមានគម្ពីរទាំងឡាយរបស់ទ្រង់ ជឿពួកអ្នកនាំសាររបស់ទ្រង់ ជឿចំពោះថ្ងៃបរលោក និងមានជំនឿចំពោះព្រះលិខិតកំណត់ល្អនិងអាក្រក់។គាត់និយាយថា : «អ្នកនិយាយត្រូវហើយ»។ គាត់បានសួរទៀតថា : «ចូរប្រាប់ខ្ញុំពីកុសលធម៌?»។ អ្នកនាំសារបានមានប្រសាសន៍ថា : «អ្នកត្រូវតែ គោរពសក្ការៈចំពោះអល់ឡោះដូចដែលអ្នកឃើញទ្រង់ ដ្បិតតែ*

*អ្នកមិនបានឃើញទ្រង់ តែទ្រង់ទតឃើញអ្នក...រហូតដល់គាត់បានមានប្រសាសន៍ថា : «នែអ៊ូម៉ើរ! តើអ្នកដឹងទេ អ្នកមកសួរនោះ ជានរណា?»។ ខ្ញុំបាននិយាយថា : «អល់ឡោះជាម្ចាស់និងអ្នកនាំសាររបស់ទ្រង់ជាអ្នកដឹងច្បាស់ជាងគេ»។ គាត់បានមានប្រសាសន៍ថា : «ពិតណាស់ គាត់គឺជាទេវតាជីព្រីលមកជួបពួកអ្នក ដើម្បីបង្រៀនពួកអ្នកអំពីសាសនារបស់ពួកអ្នក»។*

នៅក្នុងរបាយការណ៍ទាំងពីរខាងលើនេះ លោកមូហាំម៉ាត់បានបញ្ជាក់ប្រាប់អំពីមូលដ្ឋានគ្រឹះនៃឥស្លាម គោលការណ៍គ្រឹះនៃជំនឿ និងមូលដ្ឋានគ្រឹះនៃកុសលធម៌។ គាត់ពុំបាននិយាយលំអិតដល់ការអនុវត្តនៃសាសនានោះទេ។ ពិតណាស់ក្នុងរបាយការណ៍ទី១ របស់លោកមូអើសពុំបានលើកឡើងអំពីការបួសនិងការធ្វើធម្មយាត្រាហាជ្ជទេ ហើយពួកសាសនវិទូឥស្លាមបានអះអាងថា ក្នុងរបាយការណ៍នេះ ពុំទាន់ដល់ពេលត្រូវផ្សព្វផ្សាយពីរឿងនេះនៅឡើយទេ។



ក៏ដូចគ្នាដែរ ខ្ញុំព្យាយាមទាញហេតុផលតាមលទ្ធភាព សម្រាប់គ្រប់ប្រធានបទនីមួយៗពីបញ្ហាជំនឿដោយសំអាងលើព្រះបន្ទូលមួយ ឬច្រើនអំពីគម្ពីរអាល់គួរអានដូចព្រះបន្ទូលរបស់អល់ឡោះដែលទ្រង់បានមានបន្ទូលថា :

﴿ وَإِنۡ أَحَدٞ مِّنَ ٱلۡمُشۡرِكِينَ ٱسۡتَجَارَكَ فَأَجِرۡهُ حَتَّىٰ يَسۡمَعَ كَلَٰمَ ٱللَّهِ ﴾ سورة التوبة: ٦

មានន័យថា :«*នែអ្នកនាំសាររបស់អល់ឡោះ! បើសិនជាមានអ្នកពហុទេពណាម្នាក់មកសុំសិទ្ធិជ្រកកោនជាមួយអ្នក ចូរផ្ដល់សិទ្ធិឱ្យគេ ដើម្បីឱ្យគេបានស្ដាប់ព្រះបន្ទូលរបស់អល់ឡោះ*»។

គប្បីឱ្យពួកគេបានស្តាប់ព្រះបន្ទូលរបស់អល់ឡោះ ពីព្រោះព្រះបន្ទូលរបស់ទ្រង់មានមន្តសណ្តំទាក់ទាញប្រាជ្ញាស្មារតីរបស់គេ។ ជាមួយនោះដែរ ពួកអ្នកដែលបានចូលឥស្លាមភាគច្រើននិយាយប្រាប់ថា ពួកគេបានអានគម្ពីរអាល់គួរអានដែលជាមូលហេតុដែលនាំឱ្យគេចូលឥស្លាម។ ខ្ញុំព្យាយាមជៀសវាងពីបញ្ហាទាំងឡាយដែលនាំឱ្យអ្នកអានមានការងឿងឆ្ងល់។ ដូច្នេះទើបខ្ញុំបានឆ្លើយតបនឹងរឿងរ៉ាវស្រពិចស្រពិលមួយចំនួន ដោយបង្ហាញត្រឹមតែភស្តុតាង អំណះអំណាង និងគោលការណ៍គ្រឹះ ដែលពុំមានភាពស្រពិលស្រពិលតែប៉ុណ្ណោះ។

ខ្ញុំព្យាយាមធ្វើគ្រប់យ៉ាងដើម្បីឱ្យសៀវភៅនេះងាយស្រួល ដោយព្យាយាមលើកឡើងអំពីភស្តុតាងនិងអំណះអំណាងដែលច្បាស់លាស់ ជៀសវាងពីការសរសេរច្រើនជំពូកនិងប្រធានបទដែលមានខ្លឹមសារស៊ីជម្រៅ ដូចដែលមាននៅក្នុងសៀវភៅទ្រឹស្តីផ្សេងៗ។

នេះជាការខិតខំប្រឹងប្រែងរបស់មនុស្សមានចរិតជាមនុស្សពីធម្មជាតិ ដែលតែងតែមានភាពខ្វះខាតនិងកំហុសឆ្គង។ ដូច្នេះអ្វីដែលត្រឹមត្រូវ គឺមកអំពីអល់ឡោះជាម្ចាស់ ហើយសូមទ្រង់មេត្តាចាត់ទុកនេះជាស្នាដៃដ៏ស្មោះត្រង់ជ្រះថ្លាដើម្បីទ្រង់។ សូមទ្រង់មេត្តាទទួលយកអំពីខ្ញុំចាត់ទុកជាសំណាងល្អ ដែលគេទទួលកត់ត្រាទុកក្នុងបញ្ជីព្រះលិខិត ហើយចំពោះកំហុសឆ្គងទាំងឡាយគឺមកអំពីរូបខ្ញុំ និងភាពចង្រៃនៃពពួកបិសាច។ អល់ឡោះជាម្ចាស់ទ្រង់ជ្រះស្អាតពីកំហុសឆ្គង និងការធ្វេសប្រហែសទាំងឡាយ។ សូមអល់ឡោះជាម្ចាស់ មេត្តាប្តូរកំហុស

ឆ្គងទាំងឡាយជាភាពត្រឹមត្រូវ ហើយរាល់ការវង្វេងទៅជាការត្រឹមត្រូវវិញនៅក្នុងស្ថានដែននេះ។

នៅទីបញ្ចប់ ខ្ញុំសូមថ្លែងអំណរគុណដល់អស់លោកដែលបានបោះពុម្ពផ្សាយ បកប្រែនិងចែកចាយសៀវភៅនេះ។ សូមបួងសួងចំពោះអល់ឡោះជាម្ចាស់ សូមទ្រង់មេត្តាបន្ថែមផលបុណ្យដល់អស់លោកអ្នកឱ្យកាន់តែច្រើនឡើងទ្វេដង។ សូមទ្រង់មេត្តាចាត់ទុកការងារនេះជាកុសលធម៌ ជាចំណេះដឹងដែលមានប្រយោជន៍។ ទ្រង់ជាម្ចាស់និងជាអ្នកដែលមានអានុភាពក្នុងរឿងនេះ។ ការបួងសួងចុងក្រោយរបស់យើងខ្ញុំ គឺសូមសរសើរដឹងគុណដល់អល់ឡោះជាព្រះអម្ចាស់នៃសកលលោកទាំងមូល។ សូមប្រសិទ្ធិពរជ័យ សិរីមង្គល កើតមានដល់អ្នកនាំសារយើងមូហាំម៉ាត់(សន្តិភាពកើតមានចំពោះលោក) និងសហការីទាំងអស់គ្នារបស់លោក។



បណ្ឌិត មូហាំម៉ាត់ ពិន អាប់ឌុលឡោះ ពិន សឡេះ អើសសាហ៊ីម

# សេចក្ដីផ្ដើម

ជាការពិតណាស់ការសរសើរទាំងឡាយចំពោះអល់ឡោះជាម្ចាស់នៃទីបលោកទាំងមូល។ ការសុំជំនួយ សុំអធ្យាស្រ័យទោស ការគាំពារពីអល់ឡោះជាម្ចាស់ ឱ្យជៀសផុតពីអំពើអាក្រក់ទាំងឡាយដែលកើតចេញពីខ្លួនយើងនិងកើតចេញពីទង្វើរបស់យើង។ អ្នកណាដែលទទួលបានការចង្អុលបង្ហាញអំពីអល់ឡោះ គឺគ្មានអ្វីធ្វើឱ្យរូបគេវង្វេងជាដាច់ខាត។ ចំណែកអ្នកដែលទ្រង់ធ្វើឱ្យគេវង្វេង គឺគ្មានអ្វីធ្វើឱ្យទទួលបាននូវការចង្អុលបង្ហាញជាដាច់ខាត។ សូមសច្ចាថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពយ៉ាងពិតប្រាកក លើកលែងតែអល់ឡោះជាម្ចាស់តែមួយគត់។ទ្រង់គ្មានអ្នកសហការ។ សូមសច្ចាថា មូហាំម៉ាត់ (សូមសន្តិភាពកើតមានចំពោះលោក) ជាបម្រើ និងជាអ្នកនាំសាររបស់ទ្រង់។

ជាបឋម សូមមេត្តាជ្រាបថា អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនពួកអ្នកនាំសាររបស់ទ្រង់ទៅកាន់សាកលលោកទាំងមូលដើម្បីកុំឱ្យមនុស្សមានលេសចំពោះអល់ឡោះ។ ទ្រង់បានប្រទានគម្ពីរជាច្រើនមកឱ្យពួកគេ ដើម្បីជាមគ្គុទ្ទេសក៍ ក្ដីមេត្តាករុណា ពន្លឺ និងជាដំណោះស្រាយ។ ពួកអ្នកនាំសារជំនាន់ដើម ត្រូវគេបញ្ជូនទៅកាន់សាសន៍របស់ពួកគេជាលក្ខណៈពិសេស ហើយគេទាមទារឱ្យពួកគេរក្សាគម្ពីរផ្សេងៗរបស់ពួកគេ។ ក៏ប៉ុន្តែ អត្ថបទគម្ពីររបស់ពួកគេបានបាត់បង់ ត្រូវគេកែប្រែឱ្យខុសពីច្បាប់ដើម និងផ្លាស់ប្ដូរក្បួនច្បាប់ ពីព្រោះគេប្រទាន

ចុះមកដោយកំណត់សម្រាប់តែពួកប្រជាជាតិណាមួយនិងក្នុងសម័យកាលណាមួយជាកំណត់។

បន្ទាប់មកអល់ឡោះជាម្ចាស់ទ្រង់បានជ្រើសរើសសាហាវីរបស់យើងមូហាំម៉ាត់(សូមសន្តិភាពកើតមានចំពោះលោក)ជាលក្ខណៈពិសេស ដោយទ្រង់បានតែងតាំងគាត់ជាអ្នកនាំសារនិងជាអ្នកនាំសារចុងក្រោយបង្អស់របស់ទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ مَّا كَانَ مُحَمَّدٌ أَبَآ أَحَدٍ مِّن رِّجَالِكُمْ وَلَٰكِن رَّسُولَ ٱللَّهِ وَخَاتَمَ ٱلنَّبِيِّـۧنَ ﴾ سورة الأحزاب: ٤٠

មានន័យថា : *«មូហាំម៉ាត់ពុំមែនជាបិតារបស់បុរសណាម្នាក់ ក្នុងចំណោមពួកអ្នកទាំងអស់គ្នាទេ ក៏ប៉ុន្តែគេជាអ្នកនាំសាររបស់អល់ឡោះ និងជាណាពីចុងក្រោយ»*។

អល់ឡោះជាម្ចាស់បានលើកតម្កើងលោក ដោយប្រទាននូវគម្ពីរដ៏ប្រសើរបំផុតគឺគម្ពីរ អាល់គួរអាន ហើយទ្រង់បានធានារក្សាគម្ពីរនេះដោយព្រះអង្គផ្ទាល់។ ទ្រង់ពុំបានដាក់បន្ទុកការថែរក្សានេះទៅលើមនុស្សណាម្នាក់ឡើយ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّا نَحْنُ نَزَّلْنَا ٱلذِّكْرَ وَإِنَّا لَهُۥ لَحَٰفِظُونَ ﴿٩﴾ ﴾ سورة الحجر: ٩

មានន័យថា : *«ជាការពិត យើងបានប្រទានគម្ពីរអាល់គួរអានចុះមក ហើយយើងជាអ្នកថែរក្សាគម្ពីរនេះ»*។

អល់ឡោះជាម្ចាស់ទ្រង់រក្សាក្បួនច្បាប់គម្ពីរនេះ ឱ្យឋិតថេររហូតដល់ថ្ងៃបរលោក។ ទ្រង់បានបញ្ជាក់អំពីកត្តាចាំបាច់ ដែលនាំឱ្យក្បួនច្បាប់នេះមានអត្ថិភាពដោយជំនឿ ការអំពាវនាវផ្សព្វផ្សាយ និងការអត់ធ្មត់ក្នុងការប្រតិបត្តិ។ នេះជាមាគ៌ារបស់អ្នកនាំសារមូហាំម៉ាត់

ហើយក៏ជាមាគ៌ារបស់ពួកអ្នកដែលកាន់តាមលោកជំនាន់ក្រោយៗ។ វាគឺការផ្សព្វផ្សាយអំពាវនាវមនុស្សឆ្ពោះទៅរកអល់ឡោះជាម្ចាស់ដោយផ្អែកលើចក្ខុវិស័យច្បាស់លាស់។ អល់ឡោះជាម្ចាស់ ទ្រង់បានមានព្រះបន្ទូលបញ្ជាក់ពីសេចក្ដីនេះថា ៖

﴿ قُلْ هَٰذِهِۦ سَبِيلِىٓ أَدْعُوٓا۟ إِلَى ٱللَّهِ ۚ عَلَىٰ بَصِيرَةٍ أَنَا۠ وَمَنِ ٱتَّبَعَنِى ۖ وَسُبْحَٰنَ ٱللَّهِ وَمَآ أَنَا۠ مِنَ ٱلْمُشْرِكِينَ ﴿١٠٨﴾ ﴾ يوسف: ١٠٨

មានន័យថា ៖ *«មូហាំម៉ាត់ ចូរអ្នកមានប្រសាសន៍ថា ៖«នេះគឺជាមាគ៌ារបស់ខ្ញុំ។ ខ្ញុំអំពាវនាវទៅរកការគោរពសក្ការៈចំពោះអល់ឡោះដោយផ្អែកលើភស្តុតាងច្បាស់លាស់។ រូបខ្ញុំ និងអ្នកដែលតាមខ្ញុំ។សូមប្រសិទ្ធិពរដ៏ពិសិដ្ឋដល់ទ្រង់ដែលស្អាតស្អំពីអំពើពហុទេព ហើយរូបខ្ញុំពុំមែនជាអ្នកពហុទេពនិយមនោះទេ»។*

ទ្រង់បានបង្គាប់ឱ្យអ្នកនាំសារមូហាំម៉ាត់អត់ធ្មត់ ចំពោះរាល់ការបង្កទុក្ខលំបាកក្នុងផ្លូវរបស់អល់ឡោះ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ فَٱصْبِرْ كَمَا صَبَرَ أُو۟لُوا۟ ٱلْعَزْمِ مِنَ ٱلرُّسُلِ ﴾ سورة الأحقاف: ٣٥

មានន័យថា ៖ *«នែមូហាំម៉ាត់! ចូរអត់ធ្មត់ចំពោះទុក្ខលំបាកទាំងឡាយដូចជាពួកអ្នកនាំសារដែលមានការប្ដេជ្ញាចិត្តខ្ពស់»។*

អល់ឡោះទ្រង់បានមានព្រះបន្ទូលទៀតថា ៖

﴿ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ ٱصْبِرُوا۟ وَصَابِرُوا۟ وَرَابِطُوا۟ وَٱتَّقُوا۟ ٱللَّهَ لَعَلَّكُمْ تُفْلِحُونَ ﴿٢٠٠﴾ ﴾
سورة آل عمران: ٢٠٠

មានន័យថា ៖ *«ឱពួកអ្នកដែលមានជំនឿទាំងឡាយ! ចូរអ្នកជឿចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ប្រតិបត្តិតាមច្បាប់របស់ទ្រង់។ ចូរ*

*អ្នកអត់ធ្មត់ក្នុងការគោរពប្រតិបត្តិចំពោះព្រះជាម្ចាស់របស់ពួកអ្នក និងគ្រោះឧបសគ្គទាំងឡាយ។ ចូរអ្នកតស៊ូអត់ធ្មត់ចំពោះពួកសត្រូវ ដើម្បីកុំឱ្យពួកគេតស៊ូ និងអត់ធ្មត់ខ្លាំងជាងពួកអ្នក។ ចូរអ្នកច្បាំងតស៊ូនឹងសត្រូវរបស់យើង និងសត្រូវរបស់ពួកអ្នក។ ចូរអ្នកកោតខ្លាចអល់ឡោះ។ សង្ឃឹមថាពួកអ្នកទទួលបានជោគជ័យ»។*

ក្នុងនាមជាអ្នកប្រតិបត្តិមាគ៌ារបស់អល់ឡោះដ៏ឧត្តម ទើបខ្ញុំបានរៀបរៀងសៀវភៅនេះដើម្បីអំពាវនាវទៅរកផ្លូវរបស់អល់ឡោះ ផ្អែកលើទស្សនវិស័យក្នុងគម្ពីរអាល់គួរអាន និងតាមការចង្អុលបង្ហាញនៃលំអានរបស់អ្នកនាំសាររបស់អល់ឡោះ។ ម៉្យាងទៀត ខ្ញុំបានបកស្រាយសង្ខេបអំពីការបង្កើតចក្រវាល ការបង្កើតមនុស្ស និងការផ្តល់តម្លៃដល់មនុស្ស ការបញ្ជូនពួកអ្នកនាំសារមកបង្រៀនមនុស្ស និងការអធិប្បាយអំពីស្ថានភាពសាសនាផ្សេងៗនាសម័យមុន។ បន្ទាប់មក ខ្ញុំបានពន្យល់ពីអត្ថន័យនៃឥស្លាម មូលដ្ឋានគ្រឹះនៃឥស្លាម។ ដូច្នេះចំពោះអ្នកដែលចង់ទទួលបាន ការចង្អុលបង្ហាញនេះ គឺជាភស្តុតាងដែលមាននៅចំពោះមុខ ហើយនរណាចង់បានរួចផុតពីភ្លើងនរកគឺខ្ញុំអាចជួយបង្ហាញផ្លូវបាន។ ជាមួយនោះ ចំពោះអ្នកដែលពេញចិត្តចង់យកគំរូតាមដំណើរបស់ពួកណាពី ពួកអ្នកនាំសារ និងពួកអ្នកមានកុសលធម៌ នេះគឺជាផ្លូវរបស់ពួកគេ។ ផ្ទុយទៅវិញ ចំពោះដែលអ្នកប្រកែកមិនពេញចិត្តនឹងពួកគេ នោះគឺជាពួកអ្នកល្ងង់ខ្លៅដោយខ្លួនឯង និងដើរលើផ្លូវដែលវង្វេង។

ពិតណាស់ គ្រប់ម្ចាស់សាសនាទាំងអស់អំពាវនាវមនុស្សទៅរកសាសនារបស់ខ្លួន។ ពួកគេជឿជាក់ថា សាសនារបស់ខ្លួនគឺត្រឹមត្រូវជាងសាសនាដទៃ ហើយអ្នកជំនឿម្នាក់ៗ អំពាវនាវមនុស្សទៅរកម្ចាស់ជំនឿរបស់ខ្លួន និងលើកតម្កើងមេដឹកនាំលទ្ធិរបស់ខ្លួន។

រីឯអ្នកមូស្លីមវិញ មិនបានអំពាវនាវមនុស្សទៅរកលទ្ធិរបស់ខ្លួនទេ ពីព្រោះតែរូបគេពុំមានលទ្ធិផ្ទាល់ខ្លួន។ ប្រាកដណាស់សាសនាឥស្លាម គឺជាសាសនារបស់អល់ឡោះដែលទ្រង់សព្វព្រះទ័យទទួលស្គាល់វា ដូចដែលទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّ ٱلدِّينَ عِندَ ٱللَّهِ ٱلْإِسْلَٰمُ ﴾ سورة آل عمران: ١٩

មានន័យថា : «*ជាការពិតណាស់ សាសនាដែលអល់ឡោះជាម្ចាស់សព្វព្រះទ័យនិងទទួលស្គាល់សម្រាប់ខ្ញុំបម្រើរបស់ទ្រង់អនុវត្តគឺសាសនាឥស្លាម*»។

សាសនានេះ ពុំអំពាវនាវទៅរកការលើកតម្កើងមនុស្សឡើយ។ មនុស្សគ្រប់រូបនៅក្នុងសាសនារបស់អល់ឡោះស្មើភាពគ្នា ពុំមានការបែងចែករវាងពួកគេទេ លើកលែងតែដោយសេចក្តីគោរពកោតខ្លាច។ ក៏ប៉ុន្តែ សាសនានេះអំពាវនាវមនុស្ស ឱ្យដើរតាមផ្លូវរបស់ព្រះជាម្ចាស់ មានជំនឿចំពោះពួកអ្នកនាំសាររបស់ទ្រង់ គោរពប្រតិបត្តិច្បាប់បញ្ញត្តិដែលទ្រង់បានប្រទានកំណត់មកដល់អ្នកនាំសារចុងក្រោយបង្អស់គឺមូហាំម៉ាត់(សូមសន្តិភាពកើតមានចំពោះលោក)។ ព្រះជាម្ចាស់បានបង្គាប់ឱ្យអ្នកនាំសារនេះផ្សព្វផ្សាយសាសនាឥស្លាមដល់មនុស្សលោកទូទៅ។

ហេតុដូច្នេះ ទើបខ្ញុំបានចងក្រងសៀវភៅនេះ ដើម្បីជាការអំពាវនាវទៅរកសាសនារបស់អល់ឡោះដែលទ្រង់សព្វព្រះទ័យ។ តាមរយៈសាសនានេះ ដែលទ្រង់បានបញ្ជូនអ្នកនាំសារចុងក្រោយបង្អស់។ សាសនានេះ ជាការចង្អុលបង្ហាញដល់អ្នកដែលប្រាថ្នាចង់ទទួលបានការចង្អុលបង្ហាញ។ វាគឺជាមគ្គុទ្ទេសក៏សម្រាប់អ្នកដែលប្រាថ្នាចង់បានសុភមង្គល។ សូមស្បថចំពោះអល់ឡោះមនុស្សលោកនឹងមិនមានសុភមង្គលពិតជាដាច់ខាត លុះត្រាតែពួកគេឋិតនៅក្នុងសាសនានេះ។ ម្យ៉ាងទៀត គេមិនស្គាល់សេចក្តីស្ងប់ជាដាច់ខាត លុះត្រាតែគេមានជំនឿទទួលស្គាល់ អល់ឡោះជាព្រះជាម្ចាស់របស់ខ្លួន ហើយទទួលស្គាល់មូហាំម៉ាត់ជាអ្នកនាំសារ និងទទួលស្គាល់ឥស្លាមជាសាសនារបស់ខ្លួន។ ប្រាកដណាស់ មានពួកអ្នកទទួលបានការចង្អុលបង្ហាញរាប់ពាន់នាក់បានចូលឥស្លាម ហើយបានធ្វើសាក្សីពីរឿងនេះតាំងពីសម័យមុននិងសម័យបច្ចុប្បន្ន។ ពួកគេបានធ្វើសាក្សីថា ពួកគេពុំទាន់បានស្គាល់ពីខ្លឹមសារនៃជីវិតនោះទេ លើកលែងតែក្រោយពេលដែលពួកគេបានចូលឥស្លាម។ ពួកគេពុំដែលបានស្គាល់រសជាតិនៃសុភមង្គលទេ លើកលែងតែក្រោយពេលដែលពួកគេបានមកជ្រកក្រោមម្លប់ឥស្លាម។ ពីព្រោះមនុស្សគ្រប់រូបតែងស្វែងរកសុភមង្គល ស្វែងរកសេចក្តីស្ងប់ក្នុងជីវិត ហើយខិតខំរកខ្លឹមសារពិតនៃជីវិត។ ខ្ញុំបានរៀបរៀងសៀវ ភៅនេះឡើង និងបួងសួងសុំពីអល់ឡោះជាម្ចាស់ សូមទ្រង់មេត្តាចាត់ទុកការងារនេះជាការងារដ៏មានសទ្ធាជ្រះថ្លាដើម្បីទ្រង់ ក្នុងបំណងអំពាវនាវមនុស្សទៅរកផ្លូវរបស់ទ្រង់។ ម្យ៉ាងវិញទៀតសូមទ្រង់មេត្តាទទួល

កត់ត្រាការងារនេះក្នុងបញ្ជីអំពើល្អ។ សូមទ្រង់មេត្តាចាត់ទុកការងារនេះជាអំពើកុសលផលមិដែលមានប្រយោជន៍ដល់ម្ចាស់ស្នាដៃនេះ ទាំងនៅលោកិយ៍និងបរលោក។

ខ្ញុំអនុញ្ញាតសម្រាប់បងប្អូន ដែលមានបំណងចង់បោះពុម្ពផ្សាយជាភាសាអ្វីក៏បាន ថតសម្លេង បកប្រែជាភាសាអ្វីក៏បាន ប៉ុន្តែសូមរក្សាអត្ថន័យក្នុងការប្រែសម្រួលអត្ថបទដើមជាភាសាទី២។ ម៉្យាងទៀត ខ្ញុំសូមមេត្តាចំពោះបងប្អូនដែលមានមតិយោបល់អ្វី ឬមានចំណុចរិះគន់កែលម្អ ទោះលើអត្ថបទដើម ឬអត្ថបទបកប្រែ សូមមេត្តាទាក់ទងមកខ្ញុំតាមអាស័យដ្ឋាន ដូចបានជម្រាបជូនខាងលើ។

សូមអរគុណចំពោះអល់ឡោះតាំងពីដើមរហូតដល់ទីបញ្ចប់ ទាំងខាងក្រៅ និងខាងក្នុង ហើយសម្រាប់ទ្រង់ មានការដឹងគុណទាំងកំបាំងនិងបើកចំហ។ សម្រាប់ទ្រង់មានការដឹងគុណ ទាំងក្នុងលោកនេះនិងលោកខាងមុខ។ សម្រាប់ទ្រង់មានការដឹងគុណពាសពេញមេឃានិងភពផែនដី និងពាសពេញអ្វីទាំងអស់ដែលទ្រង់សព្វព្រះទ័យ។ សូមពរជ័យសិរីសួស្តី កើតមានដល់អ្នកនាំសារមូហាំម៉ាត់ ពួកសហការី និងពួកអ្នកដែលដើរតាមមាគ៌ារបស់លោក រហូតដល់ថ្ងៃបរលោក។

**អ្នកនិពន្ធ**

បណ្ឌិត មូហាំម៉ាត់ ពិន អាប់ឌុលឡោះ ពិន សឡេះ អើសសាហ៊ីម

# តើមាគ៌ាត្រឹមត្រូវនៅឯណា?

នៅពេលដែលមនុស្សម្នាក់ធំដឹងក្ដីឡើង តែងតែមានសំនួរជាច្រើនចោទសួរក្នុងខួរក្បាលរបស់គេ ដូចជា តើខ្ញុំមកពីណា? ហេតុអ្វីបានជាខ្ញុំកើតមក? តើវាសនារបស់ខ្ញុំនឹងទៅជាយ៉ាងណា? តើអ្នកណាបានបង្កើតខ្ញុំ? តើនរណាបង្កើតចក្រវាលដែលនៅជុំវិញខ្ញុំ? តើនរណាជាម្ចាស់កម្មសិទ្ធិ និងជាអ្នកចាត់ចែងចក្រវាលទាំងមូល? និងសំនួរផ្សេងៗជាច្រើនទៀត។

មនុស្សមិនអាចដឹងចម្លើយសម្រាប់សំនួរទាំងនេះដោយខ្លួនឯង ហើយវិទ្យាសាស្ត្រទំនើបក៏មិនអាចឈានដល់ការឆ្លើយតបនឹងសំនួរទាំងនេះដែរ ពីព្រោះបញ្ហាទាំងនេះពាក់ព័ន្ធនឹងវិស័យសាសនា។ ហេតុនេះ ទើបបានជាមានការនិទានផ្សេងៗ មានរឿងទេវកថាច្រើនបែបច្រើនយ៉ាងជុំវិញបញ្ហាទាំងនេះដែលធ្វើឱ្យមនុស្សរឹតតែវង្វេងនិងស្រពិចស្រពិល។ ដូច្នេះមនុស្សលោកពុំអាចទទួលបាននូវចម្លើយមួយដ៏ស្ងប់ចិត្តនិងពេញលេញសម្រាប់បញ្ហាទាំងនេះបានទេ លើកលែងតែអល់ឡោះជាម្ចាស់ចង្អុលបង្ហាញគេឱ្យយល់ពីសាសនាដ៏ត្រឹមត្រូវនេះ។វាគឺជាសាសនាដែលបានបកស្រាយយ៉ាងពិស្ដារអំពីបញ្ហានេះ និងបញ្ហាផ្សេងៗទៀត។ បញ្ហាទាំងនេះជាបញ្ហាអាថ៌កំបាំង ហើយមានតែសាសនាដ៏ត្រឹមត្រូវនេះមួយគត់ ដែលមានសច្ចភាពនិងសម្ដីស្មោះត្រង់ ពីព្រោះជាសាសនាតែមួយមកអំពីអល់ឡោះជាម្ចាស់ ដែលទ្រង់បានត្រាស់បន្ទូលទៅកាន់ពួកណាពី និងពួកអ្នកនាំសាររបស់ទ្រង់។ ដូច្នេះចាំបាច់ចំពោះមនុស្សលោកត្រូវតម្រង់ឆ្ពោះទៅរកសាសនាដ៏ត្រឹមត្រូវ

នេះ សិក្សាស្វែងយល់ និងមានជំនឿដើម្បីឱ្យខ្លួនចាកផុតពីការវង្វេងខ្វល់ខ្វាយ បំបាត់ការមន្ទិលសង្ស័យ ហើយទទួលបានការចង្អុលបង្ហាញទៅរកផ្លូវដ៏ត្រឹមត្រូវ។

ក្នុងទំព័របន្ទាប់ ខ្ញុំសូមអំពាវនាវបងប្អូនឱ្យដើរតាមផ្លូវដ៏ត្រឹមត្រូវរបស់អល់ឡោះ ហើយខ្ញុំនឹងបង្ហាញជូននូវអំណះអំណាង ភស្តុតាងដើម្បីឱ្យអ្នកទាំងឡាយត្រិះរិះពិចារណាឱ្យបានជិតដល់ស៊ីជម្រៅប្រកបដោយការយកចិត្តទុកដាក់ខ្ពស់បំផុត។

## ភាពជាម្ចាស់ និងភាពជាព្រះដ៏មហាពិសិដ្ឋរបស់អល់ឡោះ

ពួកអ្នកគ្មានជំនឿទាំងឡាយគោរពសក្ការៈចំពោះព្រះជាច្រើនដែលជាសត្វលោកដូចគ្នា ដូចជា ដើមឈើ ដុំថ្ម និងមនុស្សដូចគ្នា។ ហេតុនេះ ទើបពួកជ្វីហ្វ និងពួកអ្នកមានជំនឿលើពហុទេព បានសួរអ្នកនាំសាររបស់អល់ឡោះអំពីលក្ខណៈសម្បត្តិរបស់អល់ឡោះ តើទ្រង់មកពីណា? អល់ឡោះជាម្ចាស់បានប្រទាននូវព្រះបន្ទូលមកថា :

﴿ قُلْ هُوَ ٱللَّهُ أَحَدٌ ﴿١﴾ ٱللَّهُ ٱلصَّمَدُ ﴿٢﴾ لَمْ يَلِدْ وَلَمْ يُولَدْ ﴿٣﴾ وَلَمْ يَكُن لَّهُۥ كُفُوًا أَحَدٌۢ ﴿٤﴾ ﴾ سورة الإخلاص: ١ - ٤

មានន័យថា : *«មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា :« អល់ឡោះគឺជាព្រះជាម្ចាស់តែមួយគត់។ អល់ឡោះជាទីពំនាក់អាស្រ័យនៃគ្រប់សត្វលោក។ ទ្រង់គ្មានបុត្រ គ្មានបិតា និងគ្មានភរិយា។ គ្មាននរណាម្នាក់ប្រៀបផ្ទឹមនឹងទ្រង់បានឡើយ»*។

ទ្រង់បានណែនាំព្រះអង្គឯងដល់មនុស្សលោកទាំងឡាយថា :

﴿ إِنَّ رَبَّكُمُ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ يُغْشِى ٱلَّيْلَ ٱلنَّهَارَ يَطْلُبُهُۥ حَثِيثًا وَٱلشَّمْسَ وَٱلْقَمَرَ وَٱلنُّجُومَ مُسَخَّرَٰتٍۭ بِأَمْرِهِۦٓ ۗ أَلَا لَهُ ٱلْخَلْقُ وَٱلْأَمْرُ ۗ تَبَارَكَ ٱللَّهُ رَبُّ ٱلْعَٰلَمِينَ ﴿٥٤﴾ ﴾ سورة الأعراف: ٥٤

មានន័យថា : *«ឱមនុស្សលោកទាំងឡាយ! ពិតប្រាកដព្រះជាម្ចាស់របស់ពួកអ្នកគឺអល់ឡោះ។ ទ្រង់បានបង្កើតមេឃទាំងឡាយនិងផែនដីពីគ្មាន(ឱ្យទៅជាមាន)ក្នុងរយៈពេលប្រាំមួយថ្ងៃ។ បន្ទាប់មកទ្រង់បានគង់លើបល្ល័ង្ក (ការគង់ដែលសក្តិសមនឹងព្រះកិត្តិនាមរបស់ទ្រង់)។ ទ្រង់ធ្វើឱ្យពេលយប់គ្របដណ្តប់លើពេលថ្ងៃ ហើយទ្រង់ធ្វើឱ្យពន្លឺពេលថ្ងៃគ្របដណ្តប់លើពេលយប់ភ្លាមៗបន្តបន្ទាប់គ្នា។ ព្រះអាទិត្យ ព្រះចន្ទ ផ្កាយទាំងឡាយស្តាប់បង្គាប់ទ្រង់។ តើមិនមែនទេឬសម្រាប់ទ្រង់គឺការបង្កើត និងការបង្គាប់បញ្ជា? មហាស្ចារ្យអល់ឡោះ! ទ្រង់ជាព្រះជាម្ចាស់នៃសកលលោកទាំងមូល»*។



អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ ٱللَّهُ ٱلَّذِى رَفَعَ ٱلسَّمَٰوَٰتِ بِغَيْرِ عَمَدٍ تَرَوْنَهَا ۖ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۖ وَسَخَّرَ ٱلشَّمْسَ وَٱلْقَمَرَ ۖ كُلٌّ يَجْرِى لِأَجَلٍ مُّسَمًّى ۚ يُدَبِّرُ ٱلْأَمْرَ يُفَصِّلُ ٱلْءَايَٰتِ لَعَلَّكُم بِلِقَآءِ رَبِّكُمْ تُوقِنُونَ ﴿٢﴾ وَهُوَ ٱلَّذِى مَدَّ ٱلْأَرْضَ وَجَعَلَ فِيهَا رَوَٰسِىَ وَأَنْهَٰرًا ۖ وَمِن كُلِّ ٱلثَّمَرَٰتِ جَعَلَ فِيهَا زَوْجَيْنِ ٱثْنَيْنِ ۖ يُغْشِى ٱلَّيْلَ ٱلنَّهَارَ ﴾ سورة الرعد: ٢ - ٣

មានន័យថា : *«អល់ឡោះជាម្ចាស់បានបង្កើតមេឃប្រាំពីរជាន់ខ្ពស់ផុតពីដីតាមអានុភាពរបស់ទ្រង់ដោយគ្មានសសរដូចពួកអ្នកបានឃើញផ្ទាល់នឹងភ្នែក។ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក។ ការគង់ដែលសក្តិសមនឹងព្រះកិត្តិនាមរបស់ទ្រង់។ ទ្រង់បានបង្កើតព្រះអាទិត្យ ព្រះចន្ទ*

*សម្រាប់បម្រើដល់ផលប្រយោជន៍មនុស្សលោក។ ភពទាំងពីរកំពុងធ្វើចលនាតាមគន្លងរបស់វា រហូតថ្ងៃបរលោកមកដល់។ ទ្រង់ជាអ្នករៀបចំចាត់ចែងកិច្ចការលោកិយ៍និងបរលោក។ ទ្រង់បំភ្លឺរាល់ភស្តុតាងដែលបញ្ជាក់ពីអានុភាពរបស់ទ្រង់។ សង្ឃឹមថា ពួកអ្នកមានភាពជឿជាក់ចំពោះថ្ងៃដែលពួកអ្នកនឹងទៅជួបព្រះជាម្ចាស់របស់ពួកអ្នក។ អល់ឡោះជាព្រះដែលបានបង្កើតផែនដីលាតសន្ធឹងធំទូលាយ។ ទ្រង់បានបង្កើតឱ្យផែនដី មានភ្នំ និងទន្លេទាំងឡាយ ហើយទ្រង់បានបង្កើតគ្រប់ផ្លែឈើទាំងអស់មានពីរប្រភេទ។ ទ្រង់ធ្វើឱ្យពេលយប់គ្របដណ្តប់លើពេលថ្ងៃ»។*

ទ្រង់មានព្រះបន្ទូលទៀតថា :

﴿ ٱللَّهُ يَعۡلَمُ مَا تَحۡمِلُ كُلُّ أُنثَىٰ وَمَا تَغِيضُ ٱلۡأَرۡحَامُ وَمَا تَزۡدَادُۖ وَكُلُّ شَيۡءٍ عِندَهُۥ بِمِقۡدَارٍ ٨ عَٰلِمُ ٱلۡغَيۡبِ وَٱلشَّهَٰدَةِ ٱلۡكَبِيرُ ٱلۡمُتَعَالِ ٩ ﴾ سورة الرعد: ٨ - ٩

មានន័យថា : «*អល់ឡោះជាម្ចាស់ទ្រង់ដឹងអ្វីដែលស្ត្រីពរក្នុងពោះរបស់នាង តើជាកូនប្រុសឬស្រី? ហើយទ្រង់ដឹងពីគភ៌ដែលរលូតចេញពីស្បូន និងគភ៌ដែលស្ត្រីពរពោះបន្ថែមទៀត។ អ្វីគ្រប់យ៉ាងត្រូវបានកំណត់ដោយអល់ឡោះ។ ទ្រង់ដឹងច្បាស់បំផុតអំពីអាថ៌កំបាំងនិងបើកចំហ។ ទ្រង់មហាធំធេង មហាខ្ពង់ខ្ពស់»*។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ قُلۡ مَن رَّبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ قُلِ ٱللَّهُۚ قُلۡ أَفَٱتَّخَذۡتُم مِّن دُونِهِۦٓ أَوۡلِيَآءَ لَا يَمۡلِكُونَ لِأَنفُسِهِمۡ نَفۡعٗا وَلَا ضَرّٗاۚ قُلۡ هَلۡ يَسۡتَوِي ٱلۡأَعۡمَىٰ وَٱلۡبَصِيرُ أَمۡ هَلۡ تَسۡتَوِي ٱلظُّلُمَٰتُ وَٱلنُّورُۗ أَمۡ جَعَلُواْ لِلَّهِ شُرَكَآءَ خَلَقُواْ كَخَلۡقِهِۦ فَتَشَٰبَهَ ٱلۡخَلۡقُ عَلَيۡهِمۡۚ قُلِ ٱللَّهُ خَٰلِقُ كُلِّ شَيۡءٖ وَهُوَ ٱلۡوَٰحِدُ ٱلۡقَهَّٰرُ ١٦ ﴾ سورة الرعد: ١٦

មានន័យថា : *«មូហាំម៉ាត់! ចូរអ្នកសួរពួកអ្នកជឿលើពហុទេពថា តើនរណាជាព្រះជាម្ចាស់នៃមេឃនិងផែនដី? ហើយចូរប្រាប់ពួកគេថា ទ្រង់គឺអល់ឡោះ។ ចូរអ្នកសួរពួកគេថា តើពួកអ្នកយកព្រះផ្សេងគោរពសក្ការៈក្រៅពីទ្រង់ឬ? ពួកគេគ្មានលទ្ធភាពជួយខ្លួនឯងឬបង្កគ្រោះថ្នាក់នោះទេ។ ចូរប្រាប់ពួកគេថា តើអ្នកពិការភ្នែក និងអ្នកមើលឃើញមានភាពស្មើគ្នាដែរឬទេ? តើភាពងងឹតនិងពន្លឺមានភាពស្មើគ្នាដែរឬទេ? ឬក៏ពួកគេយកព្រះផ្សេងៗជាដៃគូសម្រាប់អល់ឡោះឬ? ពួកគេចេះបង្កើត ដូចការបង្កើតរបស់អល់ឡោះទេ? ដូច្នេះ ការបង្កើតរបស់ពួកគេច្រឡំនឹងការបង្កើតរបស់អល់ឡោះ។ មូហាំម៉ាត់! ចូរអ្នកប្រាប់ពួកគេថា អល់ឡោះទ្រង់ជាអ្នកបង្កើតអ្វីៗគ្រប់យ៉ាង។ ទ្រង់ជាព្រះតែមួយគត់ដែលខ្លាំងពូកែដាច់គេ»។*

អល់ឡោះជាម្ចាស់ទ្រង់បានបង្ហាញពីសញ្ញាភស្តុតាងនិងបញ្ជាក់ប្រាប់ពួកគេថា :

﴿ وَمِنْ ءَايَـٰتِهِ ٱلَّيْلُ وَٱلنَّهَارُ وَٱلشَّمْسُ وَٱلْقَمَرُ ۚ لَا تَسْجُدُوا۟ لِلشَّمْسِ وَلَا لِلْقَمَرِ وَٱسْجُدُوا۟ لِلَّهِ ٱلَّذِى خَلَقَهُنَّ إِن كُنتُمْ إِيَّاهُ تَعْبُدُونَ ﴿٣٧﴾ ﴾ سورة فصلت: ٣٧

មានន័យថា : *«សញ្ញាភស្តុតាងទាំងឡាយរបស់ទ្រង់ គឺពេលយប់ ពេលថ្ងៃ ព្រះអាទិត្យ ព្រះចន្ទ។ ចូរពួកអ្នកកុំក្រាបថ្វាយបង្គំចំពោះព្រះអាទិត្យ និងព្រះចន្ទ។ ចូរពួកអ្នកក្រាបថ្វាយបង្គំចំពោះអល់ឡោះដែលទ្រង់ជាអ្នកបង្កើតភពទាំងនោះ បើសិនជា ពួកអ្នកពិតជាគោរពសក្ការៈចំពោះយើង ប្រាកដមែន»។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ وَمِنْ ءَايَٰتِهِۦٓ أَنَّكَ تَرَى ٱلْأَرْضَ خَٰشِعَةً فَإِذَآ أَنزَلْنَا عَلَيْهَا ٱلْمَآءَ ٱهْتَزَّتْ وَرَبَتْ ۚ إِنَّ ٱلَّذِىٓ أَحْيَاهَا لَمُحْىِ ٱلْمَوْتَىٰٓ ۚ إِنَّهُۥ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿٣٩﴾ ﴾ سورة فصلت: ٣٩

មានន័យថា ៖ *«សញ្ញាភស្តុតាងរបស់អល់ឡោះ គឺអ្នកឃើញដីស្ងួតហួតហែង បន្ទាប់មកយើងបានបង្អុរទឹកភ្លៀងចុះមក ស្រាប់តែមានរុក្ខជាតិដុះដាលឡើងព្រោងព្រាត។ ពិតប្រាកដ អ្នកដែលធ្វើឱ្យដីមានរុក្ខជាតិរស់ គឺទ្រង់ជាអ្នកដែលធ្វើឱ្យសាកសពរស់ឡើងវិញដែរ។ ពិតណាស់ទ្រង់មានអានុភាពលើអ្វីៗគ្រប់យ៉ាង»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَمِنْ ءَايَٰتِهِۦ خَلْقُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَٱخْتِلَٰفُ أَلْسِنَتِكُمْ وَأَلْوَٰنِكُمْ ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّلْعَٰلِمِينَ ﴿٢٢﴾ وَمِنْ ءَايَٰتِهِۦ مَنَامُكُم بِٱلَّيْلِ وَٱلنَّهَارِ وَٱبْتِغَآؤُكُم مِّن فَضْلِهِۦٓ ﴾ سورة الروم: ٢٢-٢٣

មានន័យថា ៖ *«សញ្ញាភស្តុតាងរបស់ទ្រង់ គឺការបង្កើតមេឃនិងផែនដី មានភាសា និងពណ៌សម្បុររបស់ពួកអ្នកខុសៗគ្នា។ ពិតណាស់រឿងនេះជាសញ្ញាភស្តុតាងសម្រាប់សកលលោកទាំងមូល។ សញ្ញាភស្តុតាងរបស់ទ្រង់ គឺទ្រង់បានបង្កើតដំណេករបស់ពួកអ្នក ជាការសម្រាកសម្រាប់ពួកអ្នកនៅពេលយប់និងពេលថ្ងៃ និងការស្វែងរកកំរៃចិញ្ចឹមជីវិតរបស់ពួកអ្នក អំពីការប្រទានទាំងឡាយរបស់ទ្រង់»។*

អល់ឡោះជាម្ចាស់បានពណ៌នាអំពីព្រះអង្គឯងនូវលក្ខណៈសម្បត្តិដ៏ប្រពៃបំផុត ដូចទ្រង់បានមានព្រះបន្ទូលថា ៖

﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلۡحَيُّ ٱلۡقَيُّومُۚ لَا تَأۡخُذُهُۥ سِنَةٞ وَلَا نَوۡمٞۚ لَّهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ مَن ذَا ٱلَّذِي يَشۡفَعُ عِندَهُۥٓ إِلَّا بِإِذۡنِهِۦۚ يَعۡلَمُ مَا بَيۡنَ أَيۡدِيهِمۡ وَمَا خَلۡفَهُمۡۖ وَلَا يُحِيطُونَ بِشَيۡءٖ مِّنۡ عِلۡمِهِۦٓ إِلَّا بِمَا شَآءَۚ ٢٥٥ ﴾ سورة البقرة: ٢٥٥

មានន័យថា ៖ *«មានតែអល់ឡោះមួយគត់។ គ្មានទេម្ចាស់ដែលត្រូវគោរពពិតប្រាកដ ក្រៅពីទ្រង់។ ទ្រង់អមតៈ ទ្រង់មិនងងុយ ហើយក៏មិនដេកដែរ។ អ្វីដែលមាននៅលើមេឃ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ គ្មានបុគ្គលណាហ៊ានធ្វើអន្តរាគមន៍ លើកលែងតែមានការអនុញ្ញាតពីទ្រង់។ ទ្រង់ដឹងនូវអ្វីៗដែលមាននៅខាងមុខ និងនៅខាងក្រោយពួកគេ។ ពួកគេមិនដឹងអ្វីសោះអំពីពុទ្ធិរបស់ទ្រង់ លើកលែងតែអ្វីដែលទ្រង់សព្វព្រះទ័យ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ غَافِرِ ٱلذَّنۢبِ وَقَابِلِ ٱلتَّوۡبِ شَدِيدِ ٱلۡعِقَابِ ذِي ٱلطَّوۡلِۖ لَآ إِلَٰهَ إِلَّا هُوَۖ إِلَيۡهِ ٱلۡمَصِيرُ ٣ ﴾



سورة غافر: ٣

មានន័យថា ៖ *«ទ្រង់មហាអភ័យចំពោះរាល់ទោសកំហុសទាំងឡាយ។ ទ្រង់ទទួលនូវការសារភាពកំហុស។ ទ្រង់ដាក់ទារុណកម្មយ៉ាងខ្លាំងក្លាបំផុតចំពោះអ្នកដែលល្មើសបំពាន។ ទ្រង់មហាមេត្តាករុណាចំពោះបម្រើដែលគោរពប្រតិបត្តិ។ ពុំមានព្រះជាម្ចាស់ទេ លើកលែងតែព្រះអង្គមួយគត់។ វាសនាសត្វលោកទាំងមូលនឹងវិលត្រលប់ទៅរកទ្រង់វិញ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ هُوَ ٱللَّهُ ٱلَّذِي لَآ إِلَٰهَ إِلَّا هُوَ ٱلۡمَلِكُ ٱلۡقُدُّوسُ ٱلسَّلَٰمُ ٱلۡمُؤۡمِنُ ٱلۡمُهَيۡمِنُ ٱلۡعَزِيزُ ٱلۡجَبَّارُ ٱلۡمُتَكَبِّرُۚ سُبۡحَٰنَ ٱللَّهِ عَمَّا يُشۡرِكُونَ ٢٣ ﴾ سورة الحشر: ٢٣

មានន័យថា : *«ទ្រង់គឺអល់ឡោះ។ គ្មានព្រះជាម្ចាស់ក្រៅពីទ្រង់ឡើយ។ ទ្រង់ជាស្ដេចនៃអ្វីៗគ្រប់យ៉ាង។ ទ្រង់ជាព្រះដ៏ពិសិដ្ឋ។ ទ្រង់ជាព្រះដែលស្អាតស្អំពីភាពអាម៉ាស់។ ទ្រង់ជាអ្នកដែលបញ្ជាក់ពីភាពសច្ចៈរបស់ពួកអ្នកនាំសារទ្រង់ ដោយសញ្ញាភស្ដុតាងផ្សេងៗ។ ទ្រង់ជាព្រះដ៏ខ្លាំងពូកែ។ ទ្រង់ជាព្រះដែលមានអំណាច។ ទ្រង់ជាព្រះដ៏មហាមោទនៈ។ អល់ឡោះជាម្ចាស់ទ្រង់ស្អាតស្អំអំពីអ្វីដែលពួកគេគោរពរួមជាមួយនឹងទ្រង់»។*

អល់ឡោះ គឺជាព្រះជាម្ចាស់ប្រកបដោយគតិបណ្ឌិត មានអានុភាពខ្លាំងក្លាដែលទ្រង់បានណែនាំព្រះអង្គឯងដល់មនុស្សលោក។ ទ្រង់បានបង្ហាញភស្ដុតាងជាច្រើន បញ្ជាក់ប្រាប់ពួកគេ ហើយទ្រង់បានពណ៌នាពីលក្ខណៈសម្បត្តិដ៏សុក្រឹតពេញលេញរបស់ទ្រង់ ដែលបញ្ជាក់ពីវត្តមានរបស់ទ្រង់ ភាពជាម្ចាស់របស់ទ្រង់ និងភាពជាព្រះដែលត្រូវគេគោរពបូជា។ បញ្ញត្តិច្បាប់របស់ពួកណាពីទាំងឡាយ និងជាកត្តាចាំបាច់នៃបញ្ញាញាណ ជានិស្ស័យពីកំណើតរបស់មនុស្ស ហើយប្រជាជាតិទាំងមូល បានឯកភាពគ្នាដូច្នេះដែរ។ ខ្ញុំនឹងធ្វើការបកស្រាយសង្ខេបអំពីន័យសេចក្ដីទាំងនេះដូចតទៅៈ

## ភស្តុតាងបញ្ជាក់ថា មានទ្រង់និងភាពជាម្ចាស់របស់ទ្រង់គឺ

### ១.ទ្រង់បានបង្កើតចក្រវាលនិងអ្វីៗដ៏អស្ចារ្យមានក្នុងចក្រវាល

ឱមនុស្សលោកទាំងឡាយ! ចក្រវាលដ៏ធំទូលាយឋិតនៅជុំវិញអ្នក ផ្គុំឡើងដោយមេឃភពផ្សេងៗ គន្លងភព ផែនដី ដែលមានសណ្ឋានលាតសន្ធឹងធំទូលាយមានបែបផែនជាដែនដីនៅជាប់ៗគ្នាមានប្រភេទ

រុក្ខជាតិ និងផលានុផលផ្សេងៗអាស្រ័យតាមប្រភេទដី ហើយរាល់សភាវៈទាំងឡាយមានពីរប្រភេទ។ ពិភពលោក ឬចក្រវាលនេះមិនមែនកើតឡើងដោយខ្លួនឯងនោះទេ។ ដូច្នេះ តើនរណាជាអ្នកបង្កើតចក្រវាលឱ្យមានក្រឹត្យក្រមដ៏អស្ចារ្យនិងសុក្រឹតឥតខ្ចោះបែបនេះ? ម្យ៉ាងទៀត ជាភស្តុតាងសម្រាប់អ្នកដែលមានបញ្ញាញាណធ្វើការត្រិះរិះពិចារណាថា គ្មាននរណាក្រៅពីអល់ឡោះ ជាព្រះជាម្ចាស់តែមួយគត់ដ៏មានតេជានុភាពខ្លាំងក្លា។ គ្មានម្ចាស់ក្រៅពីទ្រង់ ហើយគ្មានព្រះក្រៅពីទ្រង់ឡើយ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَمۡ خُلِقُواْ مِنۡ غَيۡرِ شَيۡءٍ أَمۡ هُمُ ٱلۡخَٰلِقُونَ ٣٥ أَمۡ خَلَقُواْ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۚ بَل لَّا يُوقِنُونَ ٣٦ ﴾ سورة الطور: ٣٥ - ٣٦

មានន័យថា : *«តើពួកគេកើតមកដោយគ្មានអ្នកបង្កើត ឬក៏ពួកគេបង្កើតខ្លួនឯង? ពួកគេបានបង្កើត មេឃនិងផែនដីឬ? តាមពិត ពួកគេមិនជឿជាក់ចំពោះទារុណកម្មរបស់អល់ឡោះ»*។

ព្រះបន្ទូលក្នុងអាយ៉ាត់(វាក្យខណ្ឌ)ទាំងពីរនេះ មានការចាប់ផ្តើមដោយសំនួរចំនួនបីគឺៈ

១. តើពួកគេកើតមកពីគ្មានឬ?

២. តើពួកគេបង្កើតខ្លួនឯងឬ?

៣. តើពួកគេបានបង្កើតមេឃនិងផែនដីឬ?

បើសិនជាពួកគេមិនមែនកើតមកពីគ្មាន មិនមែនបង្កើតខ្លួនឯង ហើយពួកគេមិនមែនជាអ្នកបង្កើតមេឃនិងផែនដីទេ វាជាក់ច្បាស់ណាស់ ចាំបាច់ត្រូវតែទទួលស្គាល់ថា មានព្រះជាអ្នកបង្កើតពួកគេ និង

បានបង្កើតមេឃនិងផែនដី។ ទ្រង់គឺអល់ឡោះជាព្រះជាម្ចាស់តែមួយគត់ ដែលមានតេជានុភាពខ្លាំងក្លាបំផុត។

## ២. ជាតិកំណើត

រាល់សត្វលោកទាំងអស់ កើតមកដោយជាតិកំណើតទទួលស្គាល់ព្រះជាម្ចាស់ ដែលជាអ្នកបង្កើត។ ទ្រង់ជាព្រះដ៏ឧត្តុង្គឧត្តម ធំធេងខ្ពង់ខ្ពស់ សុក្រឹត ពេញលេញជាងអ្វីៗទាំងអស់។ នេះជាជំនឿដែលចាក់គ្រឹះរឹងមាំក្នុងជាតិកំណើតរបស់មនុស្ស មានកម្លាំងខ្លាំងជាងរូបមន្តគណិតវិទ្យា ហើយក៏មិនចាំបាច់បង្ហាញភស្តុតាងដែរ លើកលែងតែអ្នកដែលជាតិកំណើតរបស់គេបានផ្លាស់ប្តូរ ហើយប្រឈមនឹងស្ថានភាពណាមួយ ដែលធ្វើឱ្យជាតិកំណើតរបស់គេប្រាសចាកពីសភាពដើមរបស់វា។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ فِطْرَتَ ٱللَّهِ ٱلَّتِى فَطَرَ ٱلنَّاسَ عَلَيْهَا ۚ لَا تَبْدِيلَ لِخَلْقِ ٱللَّهِ ۚ ذَٰلِكَ ٱلدِّينُ ٱلْقَيِّمُ ﴾ سورة الروم: ٣٠

មានន័យថា : *«អល់ឡោះជាម្ចាស់បានបង្កើតមនុស្សឱ្យឋិតនៅក្នុងជាតិកំណើត។ គ្មានការផ្លាស់ប្តូរសម្រាប់ការបង្កើតរបស់អល់ឡោះទេ។ នោះគឺជាសាសនាដ៏ត្រឹមត្រូវ»។*

មូហាំម៉ាត់ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ថា :

**عن أبي هريرة رضي الله عنه كان يحدث قال النبي صلى الله عليه وسلم ( ما من مولود إلا يولد على الفطرة فأبواه يهودانه أو ينصرانه أو يمجسانه كما تنتج البهيمة بهيمة جمعاء هل تحسون فيها من جدعاء ) . ثم يقول أبو هريرة رضي الله عنه واقرؤوا إن شئتم: { فطرة الله التي فطر الناس عليها لا تبديل لخلق الله } صحيح البخاري**

មានន័យថា : *«គ្មានទារកណាមួយកើតមក លើកលែងតែកើតមកតាមជាតិកំណើត។ តែឪពុក ម្ដាយរបស់គេជាអ្នកធ្វើឱ្យគេក្លាយជាជ្វីហ្វ ឬគ្រីស្ទាន ឬក្លាយជាអ្នកគោរពព្រះអគ្គី ដូចជា សត្វពាហនៈកើតកូនមកជាសត្វពាហនៈមួយរយភាគរយ។ តើអ្នកឃើញវាដាច់ស្លឹកត្រចៀកដែរឬទេ?»*។

បន្ទាប់មក អាពូហ៊ូរ៉យរ៉ោះបាននិយាយថា ចូរសូត្រព្រះបន្ទូលរបស់អល់ឡោះដែលមានន័យថា : « អល់ឡោះជាម្ចាស់បានបង្កើតមនុស្សឋិតនៅក្នុងជាតិកំណើត។ វាគ្មានការផ្លាស់ប្ដូរទេសម្រាប់ការបង្កើតរបស់អល់ឡោះ»។ អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ទៀតថា :

**عن عياض بن جمار المجاشعي أن رسول الله صلى الله عليه وسلم قال ذات يوم في خطبته : ( ألا إن ربي أمرني أن أعلمكم ما جهلتم مما علمني يومي هذا كل مال نحلته عبدا حلال وإني خلقت عبادي حنفاء كلهم وإنهم أتتهم الشياطين فاحتالتهم عن دينهم وحرمت عليهم ما أحللت لهم وأمرتهم أن يشركوا بي ما لم أنزل به سلطانا ) صحيح مسلم.**

មានន័យថា : *«ពិតណាស់ព្រះជាម្ចាស់របស់ខ្ញុំ បញ្ជាខ្ញុំឱ្យបង្រៀនពួកអ្នកទាំងអស់គ្នា នូវអ្វីដែលពួកអ្នកមិនចេះ ដែលទ្រង់បានបង្រៀនខ្ញុំនៅថ្ងៃនេះ។ រាល់ទ្រព្យទាំងឡាយដែលយើងបានប្រទានដល់បម្រើរបស់យើងគឺហាឡាល់(ស្របច្បាប់)។ ប្រាកដណាស់ យើងបានបង្កើតបម្រើរបស់យើង ឱ្យសុចរិតត្រឹមត្រូវទាំងអស់គ្នា។ ក៏ប៉ុន្តែពួកបិសាចបានមកល្បួងពួកគេឱ្យប្រាសចាកពីសាសនា ហើយវាបានហាមប្រាមពួកគេនូវអ្វីដែលយើងធ្លាប់បានអនុញ្ញាតសម្រាប់ពួកគេ។ វាប្រើឱ្យពួក*

*គេប្រព្រឹត្តអំពើពហុទេពចំពោះយើង ដោយយើងពុំបានបញ្ចុះជាភស្តុតាង»។*

## ៣.ការឯកភាពគ្នានៃប្រជាជាតិទូទៅ

ប្រជាជាតិទូទៅបានឯកភាពគ្នាទាំងសម័យដើមនិងសម័យទំនើបថា ពិភពលោកពិតជាមានអ្នកបង្កើត គឺអល់ឡោះ ជាព្រះជាម្ចាស់នៃសកលលោកទាំងមូល។ ទ្រង់ជាព្រះដែលបានបង្កើតមេឃនិងផែនដី។ ទ្រង់គ្មានដៃគូរួមចំណែកក្នុងការបង្កើត ហើយទ្រង់គ្មានដៃគូរួមចំណែកនៅក្នុងអំណាចរបស់ទ្រង់ផងដែរ។

គ្មានការនិទានណាមួយ អំពីមនុស្សជំនាន់មុនមានជំនឿថា ព្រះទាំងឡាយរបស់ពួកគេបានរួមចំណែកជាមួយនឹងអល់ឡោះ ក្នុងការបង្កើតមេឃនិងផែនដី។ ក៏ប៉ុន្តែពួកគេបែរជាមានជំនឿថា អល់ឡោះជាម្ចាស់ជាអ្នកបង្កើតពួកគេ ជាអ្នកបង្កើតព្រះរបស់ពួកគេ។ គ្មានអ្នកបង្កើតណាក្រៅពីទ្រង់ ហើយគ្មានអ្នកផ្តល់លាភសក្ការៈណាក្រៅពីទ្រង់នោះដែរ។ ផលប្រយោជន៍ និងគ្រោះថ្នាក់ឋិតក្នុងកណ្តាប់អំណាចរបស់ទ្រង់។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលប្រាប់ពីការទទួលស្គាល់របស់ពួកអ្នកគោរពពហុទេពចំពោះភាពជាព្រះជាម្ចាស់របស់ទ្រង់ថា :

﴿ وَلَئِن سَأَلْتَهُم مَّنْ خَلَقَ السَّمَاوَاتِ وَالْأَرْضَ وَسَخَّرَ الشَّمْسَ وَالْقَمَرَ لَيَقُولُنَّ اللَّهُ ۖ فَأَنَّىٰ يُؤْفَكُونَ ﴿٦١﴾ اللَّهُ يَبْسُطُ الرِّزْقَ لِمَن يَشَاءُ مِنْ عِبَادِهِ وَيَقْدِرُ لَهُ ۚ إِنَّ اللَّهَ بِكُلِّ شَيْءٍ عَلِيمٌ ﴿٦٢﴾ وَلَئِن سَأَلْتَهُم مَّن نَّزَّلَ مِنَ السَّمَاءِ مَاءً فَأَحْيَا بِهِ الْأَرْضَ مِن بَعْدِ مَوْتِهَا لَيَقُولُنَّ اللَّهُ ۚ قُلِ الْحَمْدُ لِلَّهِ ۚ بَلْ أَكْثَرُهُمْ لَا يَعْقِلُونَ ﴿٦٣﴾ ﴾سورة العنكبوت: ٦١ – ٦٣

មានន័យថា : *«បើសិនជាអ្នកសួរពួកគេថា តើនរណាបានបង្កើតមេឃ និងផែនដី ហើយបង្កើតព្រះអាទិត្យ ព្រះចន្ទ្រ ជាប្រយោជន៍សម្រាប់ពួកគេ? ពួកគេនឹងឆ្លើយថា អល់ឡោះជាម្ចាស់។ ហេតុអ្វីបានជាពួកគេបដិសេធងាកចេញពីជំនឿ? អល់ឡោះជាម្ចាស់ទ្រង់បានប្រទានជីវភាពធូរធារដល់អ្នកណាដែលទ្រង់សព្វព្រះទ័យក្នុងចំណោមបម្រើរបស់ទ្រង់ ហើយទ្រង់រឹតត្បិតចំពោះអ្នកដទៃទៀត។ ពិតប្រាកដណាស់ទ្រង់ដឹងជ្រួតជ្រាបពីអ្វីៗគ្រប់យ៉ាង។ បើសិនជាអ្នកសួរពួកគេថា តើនរណាបញ្ចុះទឹកភ្លៀងពីលើមេឃ ធ្វើឱ្យដីមានរុក្ខជាតិដុះឡើងវិញបន្ទាប់ពីស្ងួតហួតហែង? ពួកគេនឹងឆ្លើយថា អល់ឡោះជាម្ចាស់។ មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា សេចក្តីសរសើរទាំងឡាយសម្រាប់អល់ឡោះ។ ក៏ប៉ុន្តែពួកគេភាគច្រើន មិនប្រើប្រាជ្ញាគិតនោះទេ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ وَلَئِن سَأَلْتَهُم مَّنْ خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ لَيَقُولُنَّ خَلَقَهُنَّ ٱلْعَزِيزُ ٱلْعَلِيمُ ﴿٩﴾ ﴾

سورة الزخرف: ٩

មានន័យថា : *«នែមូហាំម៉ាត់! បើសិនជាអ្នកសួរពួកគេថា តើនរណាបានបង្កើតមេឃនិងផែនដី? ពួកគេនឹងឆ្លើយថា អ្នកដែលបានបង្កើតវាគឺព្រះជាម្ចាស់ដ៏មានតេជានុភាពនិងមហាដឹង»។*

## ៤.ជំនឿជាកត្តាចាំបាច់នៃប្រាជ្ញា

ប្រាជ្ញាគ្មានជម្រើសអ្វីក្រៅពីការទទួលស្គាល់ថា សម្រាប់ចក្រវាលគឺមានព្រះជាម្ចាស់ជាអ្នកបង្កើតដ៏មហិមា ពីព្រោះប្រាជ្ញាមើលឃើញ

ចក្រវាលនេះ គឺត្រូវបានគេបង្កើតឡើង ពុំមែនកើតឡើងដោយឯកឯងទេ ហើយអ្វីដែលគេបង្កើតឡើងចាំបាច់ត្រូវតែមានអ្នកបង្កើត។

មនុស្សលោកដឹងថា ខ្លួនឯងកំពុងឆ្លងកាត់នូវវិបត្តិនិងគ្រោះថ្នាក់ជាច្រើន ហើយនៅពេលដែលខ្លួនមិនអាចប្រឈមបាន ពួកគេតែងតម្រង់ចិត្តឆ្ពោះទៅលើមេឃ ហើយបួងសួងសុំជំនួយពីព្រះជាម្ចាស់របស់ពួកគេ ដើម្បីឱ្យទ្រង់ជួយសង្គ្រោះពីទុក្ខកង្វល់ និងសេចក្ដីលំបាករបស់ពួកគេ។ ក្នុងមួយជីវិតរបស់ពួកគេ មិនព្រមជឿចំពោះព្រះជាម្ចាស់ និងគោរពបូជាចំពោះរូបដិមា។ នេះគឺជាកត្តាចាំបាច់មួយដែលមិនអាចបំភ្លេចបាន សូម្បីតែសត្វឃាត នៅពេលទទួលរងការឈឺចាប់ក៏ងើយក្បាលទៅលើមេឃ ហើយបើកភ្នែកសំឡឹងទៅលើមេឃដែរ។ ប្រាកដណាស់ អល់ឡោះជាម្ចាស់បានពណ៌នាអំពីមនុស្សថា នៅពេលគេរងគ្រោះគេតែងប្រញាប់ទៅរកព្រះជាម្ចាស់ ដើម្បីបួងសួងសុំជំនួយសង្គ្រោះ ដូចក្នុងព្រះបន្ទូលរបស់ទ្រង់ថា :

﴿ وَإِذَا مَسَّ ٱلْإِنسَـٰنَ ضُرٌّ دَعَا رَبَّهُۥ مُنِيبًا إِلَيْهِ ثُمَّ إِذَا خَوَّلَهُۥ نِعْمَةً مِّنْهُ نَسِىَ مَا كَانَ يَدْعُوٓا۟ إِلَيْهِ مِن قَبْلُ وَجَعَلَ لِلَّهِ أَندَادًا ﴾ سورة الزمر: ٨

មានន័យថា : «*នៅពេលដែលមនុស្សប្រទះនឹងគ្រោះថ្នាក់ គេនឹកដល់ព្រះជាម្ចាស់របស់គេ បួងសួងសុំការសង្គ្រោះ ដោយការសារភាពទោសកំហុស។ លុះទ្រង់ជួយសង្គ្រោះគេរួច ប្រទានពរជ័យដល់គេ គេបែរជាភ្លេចការបួងសួងរបស់គេចំពោះទ្រង់កាលពីមុន ហើយគេគោរពពហុទេព រួមជាមួយនឹងទ្រង់*»។

ទ្រង់បានមានព្រះបន្ទូលបង្ហាញពីសភាពរបស់ពួកអ្នកពហុទេពនិយមថា :

﴿ هُوَ ٱلَّذِى يُسَيِّرُكُمْ فِى ٱلْبَرِّ وَٱلْبَحْرِ ۖ حَتَّىٰٓ إِذَا كُنتُمْ فِى ٱلْفُلْكِ وَجَرَيْنَ بِهِم بِرِيحٍ طَيِّبَةٍ وَفَرِحُوا۟ بِهَا جَآءَتْهَا رِيحٌ عَاصِفٌ وَجَآءَهُمُ ٱلْمَوْجُ مِن كُلِّ مَكَانٍ وَظَنُّوٓا۟ أَنَّهُمْ أُحِيطَ بِهِمْ ۙ دَعَوُا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ لَئِنْ أَنجَيْتَنَا مِنْ هَٰذِهِۦ لَنَكُونَنَّ مِنَ ٱلشَّٰكِرِينَ ﴿٢٢﴾ فَلَمَّآ أَنجَىٰهُمْ إِذَا هُمْ يَبْغُونَ فِى ٱلْأَرْضِ بِغَيْرِ ٱلْحَقِّ ۗ يَٰٓأَيُّهَا ٱلنَّاسُ إِنَّمَا بَغْيُكُمْ عَلَىٰٓ أَنفُسِكُم ۖ مَّتَٰعَ ٱلْحَيَوٰةِ ٱلدُّنْيَا ۖ ثُمَّ إِلَيْنَا مَرْجِعُكُمْ فَنُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ﴿٢٣﴾ ﴾ سورة يونس: ٢٢ - ٢٣

មានន័យថា : «*ទ្រង់ជាអ្នកដែលធ្វើឱ្យពួកអ្នក ធ្វើដំណើរនៅលើគោក និងនៅលើសមុទ្រ។ លុះពួកអ្នកនៅលើកប៉ាល់ ហើយកប៉ាល់ទាំងនោះបានបើកបរនៅលើទឹក ដោយកម្លាំងខ្យល់បក់ ពួកគេនាំគ្នាសប្បាយរីករាយ។ ដល់ពេលខ្យល់ព្យុះមកដល់បក់បោកកប៉ាល់ទាំងនោះ មានរលកធំៗសំដៅ មករកពួកគេពីគ្រប់ទិសទី ពួកគេជឿជាក់ច្បាស់ថា នឹងត្រូវវិនាស។ ពួកគេនាំគ្នាបួងសួងដល់អល់ឡោះជាម្ចាស់ដោយចិត្តស្មោះត្រង់គោរពសក្ការៈចំពោះទ្រង់តែមួយគត់។ ពួកគេពោលថា បើសិនទ្រង់សង្គ្រោះពួកយើងឱ្យរួចផុតពីគ្រោះមហន្តរាយនេះ ពួកយើងនឹងដឹងគុណចំពោះទ្រង់។ នៅពេលដែលអល់ឡោះបានសង្គ្រោះពួកគេឱ្យរួចផុតពីគ្រោះថ្នាក់ ពួកគេបែរជាបង្កអំពើវិនាសកម្មនៅលើផែនដីនេះដោយអំពើបាបកម្ម។ ឱមនុស្សលោកទាំងឡាយ! រាល់អំពើបាបទាំងឡាយនឹងវិលត្រលប់ទៅលើខ្លួនរបស់ពួកអ្នក។ សម្រាប់ពួកអ្នក គឺសេចក្ដីសុខបន្តិចបន្តួចដែលនឹងវិនាសវិញក្នុងលោកិយ៍នេះ។ បន្ទាប់មក*

*វាសនានិងទីវិលត្រលប់របស់ពួកអ្នក គឺមកកាន់យើង ជាព្រះជាម្ចាស់។ យើងនឹងរាយរ៉ាប់ប្រាប់នូវអ្វីដែលពួកអ្នកបានធ្វើ»។*

នេះគឺព្រះដែលបានបង្កើតចក្រវាលពីគ្មានឱ្យមាន ហើយទ្រង់បានបង្កើតមនុស្សលោក ក្នុងរូបលក្ខណៈដ៏ល្អឥតខ្ចោះ។ ទ្រង់បានដាក់ក្នុងជាតិកំណើតរបស់គេ នូវការគោរពសក្ការៈនិងការប្រគល់ខ្លួនចំពោះទ្រង់។ ប្រាជ្ញារបស់គេព្រមចុះចូលជាមួយនឹងភាពជាម្ចាស់ និងភាពជាព្រះដែលត្រូវគេគោរព។ ម៉្យាងវិញទៀត អល់ឡោះទ្រង់គ្មានដៃគូក្នុងការបង្កើតលោក។ ទ្រង់គ្មានដៃគូក្នុងភាពជាព្រះរបស់ទ្រង់ ហើយភស្តុតាងបញ្ជាក់ពីរឿងនេះមានច្រើន ដូចជា៖

១. ការបង្កើតចក្រវាលនេះ គ្មានព្រះណាក្រៅពីព្រះតែមួយគត់ដែលជាអ្នកបង្កើតលោកនិងផ្តល់ជីវភាពរស់នៅ។ គ្មានព្រះណាដែលអាចនាំមកនូវផលប្រយោជន៍ និងរារាំងគ្រោះថ្នាក់លើកលែងតែព្រះអង្គ។ បើសិនជាក្នុងលោកនេះ មានព្រះផ្សេងទៀតក្រៅពីទ្រង់មែន ព្រះនោះនឹងមានសកម្មភាពបង្កើត និងបង្គាប់បញ្ជា ហើយព្រះនីមួយៗមិនព្រមរួមសហការជាមួយនឹងព្រះផ្សេងទៀតឡើយ។ ដាច់ខាតត្រូវតែព្រះនីមួយៗដណ្តើមជ័យជំនះរវាងគ្នា និងបង្ក្រាបព្រះផ្សេងទៀត។ អ្នកដែលចុះចាញ់គេមិនអាចក្លាយជាព្រះជាដាច់ខាត ហើយអ្នកដែលឈ្នះគឺជាព្រះពិត។ គ្មានព្រះណាដែលរួមចំណែកជាមួយទ្រង់ក្នុងភាពជាព្រះដូចទ្រង់។ ក៏ដូចជាគ្មានព្រះណាចូលរួមចំណែកជាមួយនឹងទ្រង់ក្នុងភាពជាម្ចាស់របស់ទ្រង់ឡើយ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ مَا ٱتَّخَذَ ٱللَّهُ مِن وَلَدٖ وَمَا كَانَ مَعَهُۥ مِنۡ إِلَٰهٍۚ إِذٗا لَّذَهَبَ كُلُّ إِلَٰهِۭ بِمَا خَلَقَ وَلَعَلَا بَعۡضُهُمۡ عَلَىٰ بَعۡضٖۚ سُبۡحَٰنَ ٱللَّهِ عَمَّا يَصِفُونَ ٩١ ﴾ سورة المؤمنون: ٩١

មានន័យថា : *«អល់ឡោះជាម្ចាស់ទ្រង់មិនយកនរណាម្នាក់ធ្វើជាកូន ហើយគ្មានព្រះផ្សេងនៅជាមួយទ្រង់ដែរ។ បើសិនជាមានព្រះច្រើនជាងព្រះតែមួយនោះ ព្រះនីមួយៗនឹងមានសត្វលោករៀងៗខ្លួន ហើយពួកគេនឹងបង្ក្រាបគ្នាទៅវិញទៅមក។ អល់ឡោះជាម្ចាស់ទ្រង់មហាពិសិដ្ឋជ្រះស្អាតពីអ្វីដែលពួកគេពិពណ៌នា»*។

២. មិនមានអ្វីមួយសក្តិសមទទួលការគោរពសក្ការៈ លើកលែងតែអល់ឡោះជាម្ចាស់ដែលទ្រង់មានអំណាចនៅលើមេឃនិងនៅលើផែនដី ពីព្រោះមនុស្សលោកតែងគោរពសក្ការៈចំពោះព្រះដែលនាំផលប្រយោជន៍មកឱ្យពួកគេ ហើយការពារពួកគេពីគ្រោះថ្នាក់ និងបញ្ចៀសពួកគេពីសេចក្តីអាក្រក់និងវិបត្តិទាំងឡាយ។ កិច្ចការទាំងនេះគ្មាននរណាម្នាក់អាចធ្វើបានក្រៅពីព្រះដែលមានអំណាចនៅលើមេឃនិងនៅលើផែនដីនិងអ្វីៗដែលនៅចន្លោះមេឃនិងដី។ បើសិនជាមានព្រះផ្សេងទៀតនៅជាមួយទ្រង់ ដូចពួកអ្នកគ្មានជំនឿបានអះអាងនោះ មនុស្សនឹងយកផ្លូវដែលនាំឱ្យពួកគេអាចឈានទៅដល់ការគោរពសក្ការៈចំពោះអល់ឡោះដែលជាម្ចាស់អំណាចដ៏ពិតប្រាកដ។ ពីព្រោះព្រះទាំងឡាយផ្សេងពីអល់ឡោះ ពួកគេក៏គោរពសក្ការៈចំពោះអល់ឡោះផងដែរ។ ដូច្នេះ សម្រាប់អ្នកដែលចង់គោរពសក្ការៈចំពោះព្រះជាម្ចាស់ដែលមានអំណាចអាចនាំមកនូវផលប្រយោជន៍ និងគ្រោះអាសន្ន គឺត្រូវគោរពសក្ការៈចំពោះព្រះពិតដែលអ្នកនៅលើ

មេឃនិងនៅលើផែនដី រួមទាំងព្រះផ្សេងជាច្រើនទៀតកំពុងគោរពសក្ការៈចំពោះទ្រង់។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿قُل لَّوۡ كَانَ مَعَهُۥٓ ءَالِهَةٞ كَمَا يَقُولُونَ إِذٗا لَّٱبۡتَغَوۡاْ إِلَىٰ ذِي ٱلۡعَرۡشِ سَبِيلٗا ٤٢﴾ سورة الإسراء: ٤٢

មានន័យថា ៖ *«មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា បើសិនជាមានព្រះផ្សេងរួមជាមួយនឹងអល់ឡោះដូចដែលពួកគេនិយាយនោះ ព្រះទាំងនោះនឹងរិះរកមធ្យោបាយ ដើម្បីដណ្តើមជ័យជំនះពីអល់ឡោះដែលទ្រង់មានរាជបល្ល័ង្ក»។*

សម្រាប់បងប្អូនដែលស្វែងរកការពិត សូមអានព្រះបន្ទូលរបស់អល់ឡោះថា ៖

﴿قُلِ ٱدۡعُواْ ٱلَّذِينَ زَعَمۡتُم مِّن دُونِ ٱللَّهِۖ لَا يَمۡلِكُونَ مِثۡقَالَ ذَرَّةٖ فِي ٱلسَّمَٰوَٰتِ وَلَا فِي ٱلۡأَرۡضِ وَمَا لَهُمۡ فِيهِمَا مِن شِرۡكٖ وَمَا لَهُۥ مِنۡهُم مِّن ظَهِيرٖ ٢٢ وَلَا تَنفَعُ ٱلشَّفَٰعَةُ عِندَهُۥٓ إِلَّا لِمَنۡ أَذِنَ لَهُۥ﴾ سورة سبأ: ٢٢ - ٢٣

មានន័យថា ៖ *«មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា ចូរពួកអ្នកបួងសួងចំពោះព្រះទាំងឡាយដែលពួកអ្នកបានអះអាងថា ជាដៃគូរបស់អល់ឡោះ។ ពួកគេគ្មានអំណាច សូម្បីតែប៉ុនសត្វស្រមោចទាំងនៅលើមេឃនិងនៅលើផែនដី។ ពួកគេគ្មានរួមចំណែកជាមួយទ្រង់ ក្នុងការគ្រប់គ្រង់មេឃនិងផែនដីទេ ហើយក៏គ្មានជួយទ្រង់ ក្នុងការបង្កើតអ្វីមួយដែរ។ គ្មានអ្នកជួយសង្គ្រោះណាម្នាក់អាចជួយសង្គ្រោះឡើយ លើកលែងតែអ្នកដែលទ្រង់អនុញ្ញាត»។*

ព្រះបន្ទូលទាំងនេះបានកាត់ផ្តាច់ចិត្តពីការជាប់ជំពាក់នឹងព្រះផ្សេងក្រៅពីអល់ឡោះចំនួនបួនប្រការគឺ៖

ទី១- អ្វីដែលគេយល់ថា ជាអ្នករួមសហការនឹងអល់ឡោះ ពុំមានអំណាចអ្វីសូម្បីប៉ុនសត្វស្រមោចក្នុងការចូលរួមនឹងអល់ឡោះ។ អ្នកដែលគ្មានអំណាច សូម្បីតែប៉ុនសត្វស្រមោច គឺគ្មានប្រយោជន៍ គ្មានបង្កគ្រោះថ្នាក់ ហើយក៏មិនសក្តិសមជាព្រះ ឬជាដៃគូសម្រាប់អល់ឡោះជាម្ចាស់ដែរ។ អល់ឡោះជាម្ចាស់ទ្រង់មានអំណាច ហើយទ្រង់តែមួយគត់ដែលចាត់ចែងកិច្ចការរបស់ពួកគេ។

ទី២-ពួកគេគ្មានអំណាចអ្វីនៅលើមេឃនិងលើផែនដី ហើយពួកគេមិនមានរួមចំណែកអ្វីសូម្បីតែប៉ុនសត្វស្រមោចទាក់ទិននឹងការគ្រប់គ្រងមេឃនិងផែនដី។

ទី៣- សម្រាប់អល់ឡោះជាម្ចាស់ គ្មានអ្នកណាជួយក្នុងការបង្កើតលោកឡើយ។ តែទ្រង់ទេ ដែលជួយពួកគេចំពោះអ្វីដែលមានប្រយោជន៍ដល់ពួកគេ ហើយការពារពួកគេពីគ្រោះថ្នាក់។ ទ្រង់មានលក្ខណៈសម្បត្តិសុក្រឹត ពេញលេញ មិនត្រូវការពួកគេឡើយ។ តែពួកគេទេដែលត្រូវការទ្រង់ជាចាំបាច់នោះ។

ទី៤-ពិតណាស់ដៃគូទាំងនោះ គ្មានអំណាចជួយសង្គ្រោះមនុស្សលោក នៅចំពោះអល់ឡោះជាម្ចាស់សម្រាប់ពួកអ្នកដើរតាមពួកគេ ហើយគេក៏មិនអនុញ្ញាតឱ្យជួយសង្គ្រោះដែរ។ អល់ឡោះជាម្ចាស់មិនអនុញ្ញាតឱ្យជួយសង្គ្រោះជាដាច់ខាត លើកលែងតែពួកអ្នកមានជំនឿចំពោះទ្រង់ ហើយពួកអ្នកមានជំនឿចំពោះទ្រង់ក៏មិនអាចជួយសង្គ្រោះនរណាម្នាក់បានដែរ លើកលែងតែមានការអនុញ្ញាតពីទ្រង់។

៣. ក្រឹត្យក្រមជាប្រព័ន្ធ នៃចក្រវាលទាំងមូលដែលមានរបៀបរៀបរយសុក្រឹតឥតខ្ចោះ គឺជាភស្តុតាងដ៏មានសក្តានុពលបញ្ជាក់ពីអ្នកដែលរៀបចំចាត់ចែង គឺជាព្រះតែមួយអង្គគត់ ជាអ្នកមានអំណាចតែមួយគត់ ជាម្ចាស់តែមួយគត់។ គ្មានព្រះជាម្ចាស់សម្រាប់សត្វលោកក្រៅពីទ្រង់ ហើយក៏គ្មានម្ចាស់សម្រាប់ពួកគេក្រៅពីទ្រង់ដែរ។ ម៉្យាងទៀត មិនមានអ្នកបង្កើតពីរនាក់សម្រាប់ចក្រវាលតែមួយ ហើយក៏គ្មានផងដែរព្រះពីរអង្គសម្រាប់ចក្រវាលតែមួយនោះ។ ក្នុងព្រះបន្ទូលអល់ឡោះជាម្ចាស់ថា :

﴿ لَوۡ كَانَ فِيهِمَآ ءَالِهَةٌ إِلَّا ٱللَّهُ لَفَسَدَتَا ﴾ سورة الأنبياء:٢٢

មានន័យថា : *«បើសិនជានៅលើមេឃនិងនៅលើផែនដី មានព្រះផ្សេងទៀតក្រៅពីអល់ឡោះនោះ ភពទាំងពីរនឹងត្រូវវិនាសហិនហោចជាមិនខាន»។*

ជាឧទាហរណ៍ បើសិនជានៅលើមេឃ និងនៅលើផែនដីមានព្រះផ្សេងទៀតក្រៅពីអល់ឡោះមែននោះ ម្ល៉េះភពទាំងពីរនឹងត្រូវទទួលរងក្តីវិនាសហិនហោចជាមិនខាន។ មូលហេតុនៃក្តីវិនាស គឺចាំបាច់ព្រះនីមួយៗត្រូវមានអំណាចក្នុងការបំផ្លាញ និងការធ្វើសកម្មភាព ហើយអាចកើតឡើងនៅពេលព្រះទាំងពីរអង្គមានជម្លោះនឹងគ្នា។ ដោយសារមូលហេតុនេះនឹងកើតឡើងនូវការវិនាសអន្តរាយ។ នេះក៏ដូចជារូបកាយតែមួយ មិនអាចមានអ្នករៀបចំដាក់វិញ្ញាណពីរដូច្នោះដែរ។ បើសិនជាដូច្នោះមែន រូបកាយនឹងត្រូវវិនាស ហើយនេះគឺ

ជាអ្វីដែលមិនអាចកើតឡើង។ យ៉ាងណាមិញ តើចក្រវាលដ៏មហាធំធេងនេះ អាចមានព្រះពីរម្ដេចនឹងកើត? គឺមិនអាចមានជាដាច់ខាត។

## ៥. ពួកណាពីនិងពួកអ្នកនាំសារឯកភាពគ្នាលើរឿងនេះ

គ្រប់ប្រជាជាតិទាំងឡាយបានឯកភាពគ្នាថា ពួកណាពីនិងពួកអ្នកនាំសារ គឺជាមនុស្សដែលមានបញ្ញាពេញលេញ ជ្រះថ្លាជាងគេ មានអាកប្បកិរិយាត្រឹមត្រូវ ខ្ពង់ខ្ពស់ជាងគេ ហើយជាអ្នកដែលផ្ដល់ដំបូន្មានច្រើនជាងគេដល់ប្រជានុរាស្ត្ររបស់ខ្លួន។ ម៉្យាងទៀត ពួកគាត់ជាអ្នកដែលប្រតិបត្តិបំណងប្រាថ្នារបស់អល់ឡោះច្រើនជាងគេ។ ពួកគាត់ជាអ្នកដែលមានការចង្អុលបង្ហាញទៅកាន់ផ្លូវត្រូវច្រើនជាងគេ ពីព្រោះពួកគាត់ទទួលការត្រាស់បន្ទូលពីអល់ឡោះជាម្ចាស់ ហើយនាំមកផ្សព្វផ្សាយដល់មនុស្សលោក។ ជាការពិតណាស់ ពួកណាពី និងពួកអ្នកនាំសារតាំងពី ណាពីដំបូងបង្អស់ឈ្មោះ អាដាំ រហូតដល់ណាពីចុងក្រោយបង្អស់ គឺមូហាំម៉ាត់បានឯកភាពគ្នា លើការអំពាវនាវប្រជានុរាស្ត្ររបស់គាត់ទៅរកជំនឿចំពោះអល់ឡោះ ហើយបោះបង់ការគោរពបូជាចំពោះព្រះផ្សេងក្រៅពីទ្រង់។ គ្មានព្រះផ្សេងដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដ ក្រៅពីព្រះអង្គឡើយ។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ وَمَآ أَرْسَلْنَا مِن قَبْلِكَ مِن رَّسُولٍ إِلَّا نُوحِىٓ إِلَيْهِ أَنَّهُۥ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱعْبُدُونِ ﴿٢٥﴾ ﴾

سورة الأنبياء:٢٥

មានន័យថា : *«យើងពុំបានបញ្ជូនអ្នកនាំសារណាម្នាក់មុនឯងឡើយ លើកលែងតែយើងបានត្រាស់បន្ទូលទៅកាន់គេថា គ្មានព្រះជាម្ចាស់ដែលគេត្រូវគោរពសក្ការៈយ៉ាងពិតប្រាកដឡើយ លើកលែងតែយើងមួយព្រះអង្គគត់។ ដូច្នេះ ចូរគោរពសក្ការៈមកចំពោះយើងចុះ»។*

ទ្រង់បានមានព្រះបន្ទូលអំពីណាពីណួសឺដែលគាត់បានមានប្រសាសន៍ទៅកាន់មនុស្សសាសន៍របស់គាត់ថា :

﴿أَن لَّا تَعۡبُدُوٓاْ إِلَّا ٱللَّهَۖ إِنِّيٓ أَخَافُ عَلَيۡكُمۡ عَذَابَ يَوۡمٍ أَلِيمٖ ٢٦﴾ سورة هود: ٢٦

មានន័យថា : *«ខ្ញុំបង្គាប់ប្រើដល់ពួកអ្នកឱ្យគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់។ ប្រាកដណាស់ ខ្ញុំបារម្ភខ្លាចពួកអ្នកទទួលរងទារុណកម្មនៅថ្ងៃដ៏សែនឈឺចាប់»។*

អល់ឡោះជាម្ចាស់ បានមានព្រះបន្ទូលអំពីណាពីចុងក្រោយបង្អស់ គឺមូហាំម៉ាត់ដែលគាត់បានមានប្រសាសន៍ទៅកាន់ជាតិសាសន៍របស់គាត់ថា :

﴿قُلۡ إِنَّمَا يُوحَىٰٓ إِلَيَّ أَنَّمَآ إِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞۖ فَهَلۡ أَنتُم مُّسۡلِمُونَ ١٠٨﴾
سورة الأنبياء: ١٠٨

មានន័យថា : *«មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា ព្រះជាម្ចាស់បានត្រាស់បន្ទូលមកកាន់ខ្ញុំថា ពិតណាស់ព្រះជាម្ចាស់របស់ពួកអ្នក គឺជាព្រះជាម្ចាស់តែមួយអង្គគត់។ តើពួកអ្នកព្រមប្រតិបត្តិទ្រង់ដែរទេ?»។*

នេះគឺជាព្រះដែលបានបង្កើតលោកពីគ្មាន ហើយទ្រង់បានបង្កើតវាយ៉ាងល្អប្រណីតជាទីបំផុត។ ទ្រង់បានបង្កើតមនុស្សឱ្យមានរូបសម្បត្តិល្អឥតខ្ចោះ ហើយទ្រង់បានលើកតម្កើងមនុស្សលោក។ លើសពីនេះ

ទ្រង់បានបង្កើតមកជាមួយនូវសភាវគតិ ដែលមនុស្សទទួលស្គាល់ភាពជាម្ចាស់ និងភាពជាព្រះដែលគេត្រូវគោរពសក្ការៈរបស់អល់ឡោះ។ ទ្រង់ធ្វើឱ្យចិត្តរបស់មនុស្សមិនស្កប់ស្កល់ លុះត្រាតែគេយល់ព្រមស្តាប់បង្គាប់និងចុះចូលជាមួយទ្រង់ ហើយដើរតាមមាគ៌ារបស់ទ្រង់។ ម៉្យាងវិញទៀត ទ្រង់បានកំណត់លើព្រលឹងរបស់គេមិនអាចទទួលនូវសេចក្តីស្ងប់ជាដាច់ខាត លុះត្រាតែរស់នៅក្បែរព្រះជាម្ចាស់ដែលជាអ្នកបង្កើតវា ហើយផ្សារភ្ជាប់ជាមួយនឹងទ្រង់។ គ្មានការផ្សារភ្ជាប់សម្រាប់ព្រលឹងក្រៅពីតាមរយៈផ្លូវរបស់ទ្រង់ដ៏ត្រឹមត្រូវដែលពួកអ្នកនាំសារដ៏ប្រពៃបាននាំមកផ្សព្វផ្សាយ។ ទ្រង់បានប្រទានបញ្ញាដល់មនុស្ស ហើយបញ្ញានេះមិនអាចនាំរូបគេឆ្ពោះទៅកាន់ផ្លូវដ៏ត្រឹមត្រូវ និងដើរតួនាទីបានយ៉ាងពេញលក្ខណៈនោះទេ លុះត្រាតែគេមានជំនឿចំពោះព្រះជាម្ចាស់របស់គេ។

នៅពេលដែលសភាវគតិ ព្រលឹងវិញ្ញាណ និងដួងចិត្តរបស់គេស្កប់ស្កល់ដើរតាមមាគ៌ាត្រឹមត្រូវ ហើយបញ្ញារបស់គេឯកភាពចំពោះអល់ឡោះ គឺគេនឹងទទួលបាននូវសេចក្តីសុខសុភមង្គល ស្កប់ស្កល់ទាំងនៅលោកីយ៍នេះនិងនៅបរលោក។ បើសិនជាមនុស្សប្រកែកស្វែងរកផ្លូវផ្សេងក្រៅពីនេះ គឺពួកគេនឹងរស់នៅក្នុងពិភពអពមង្គល លិចលង់ក្នុងជ្រលងជ្រោះដ៏គ្រោះថ្នាក់ក្នុងលោកីយ៍នេះ។ ជំនឿរបស់គេត្រូវចែករំលែករវាងព្រះបដិមាទាំងឡាយ មិនដឹងថាព្រះមួយណាជួយជាប្រយោជន៍ដល់រូបគេ និងព្រះមួយណាអាចធ្វើឱ្យរូបគេមានគ្រោះថ្នាក់។ អល់ឡោះជាម្ចាស់បានលើកឧទាហរណ៍អំពីរឿងនេះ ពីព្រោះវាធ្វើ

ឱ្យបញ្ញារបស់មនុស្សអាចយល់បាន។ ទ្រង់បានប្រៀបធៀបរវាងបុរសពីរនាក់ ម្នាក់គោរពព្រះច្រើន និងម្នាក់ទៀតគោរពសក្ការៈចំពោះព្រះជាម្ចាស់តែមួយគត់។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ ضَرَبَ ٱللَّهُ مَثَلًا رَّجُلًا فِيهِ شُرَكَآءُ مُتَشَٰكِسُونَ وَرَجُلًا سَلَمًا لِّرَجُلٍ هَلۡ يَسۡتَوِيَانِ مَثَلًاۚ ٱلۡحَمۡدُ لِلَّهِۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ﴿٢٩﴾ ﴾ سورة الزمر: ٢٩

មានន័យថា ៖ «*អល់ឡោះជាម្ចាស់ បានលើកឧទាហរណ៍អំពីបុរសម្នាក់ជាទាសករ មានចៅហ្វាយច្រើននាក់ដែលពួកគេមិនចុះសម្រុងនឹងគ្នា ហើយទាសករម្នាក់នេះទាល់គំនិតមិនដឹងជាធ្វើយ៉ាងម៉េច ដើម្បីបំពេញចិត្តពួកគេ។ រីឯបុរសម្នាក់ទៀត ជាទាសករដែលមានចៅហ្វាយតែម្នាក់ រូបគេស្គាល់ពីចំណង់ចំណូលចិត្តចៅហ្វាយរបស់ខ្លួន។ តើបុរសពីរនាក់នេះ ដូចគ្នាដែរឬទេ? សេចក្តីសរសើរទាំងឡាយសម្រាប់អល់ឡោះ។ ក៏ប៉ុន្តែពួកគេភាគច្រើនមិនយល់ពីការពិតនោះឡើយ*»។

អល់ឡោះជាម្ចាស់បានលើកឧទាហរណ៍ពីបុរសម្នាក់ដែលគោរពសក្ការៈចំពោះព្រះតែមួយនិងបុរសម្នាក់ទៀតដែលគោរពពហុទេពប្រៀបបាននឹងទាសករម្នាក់មានចៅហ្វាយច្រើនដែលតែងតែឈ្លោះគ្នា។ រូបគេត្រូវបម្រើចៅហ្វាយទាំងនោះ ហើយចៅហ្វាយម្នាក់ៗមានការបង្គាប់និងបញ្ជាឱ្យគេធ្វើការផ្សេងៗគ្នា។ បែបនេះធ្វើឱ្យគេទាល់គំនិតមិនដឹងជាប្រកាន់យកជំហរណាមួយ ឬអនុវត្តមួយណាឡើយ។ម៉្យាងទៀត រូបគេមិនអាចតម្រូវចិត្តចៅហ្វាយៗដែលមិនចុះសម្រុងគ្នានោះឡើយ។ រីឯទាសករម្នាក់ទៀតមានចៅហ្វាយតែម្នាក់។ រូបគេដឹងពីតម្រូវការ និងចំណង់ចំណូលចិត្តចៅហ្វាយរបស់ខ្លួន។ គេមិនសូវ

ខ្វល់ខ្វាយ ពីព្រោះគេមានជំហរនិងមាគ៌ាដ៏ត្រឹមត្រូវដែលខ្លួនគេត្រូវជ្រើសរើស។ ដូច្នេះ បុរសទាំងពីរមិនស្មើគ្នា។ ម្នាក់បម្រើចៅហ្វាយតែមួយមិនសូវនឿយហត់ មិនសូវខ្វល់ខ្វាយច្រើន។ រីឯម្នាក់ទៀត បម្រើចៅហ្វាយច្រើននាក់ ហើយចៅហ្វាយទាំងនោះឈ្លោះគ្នា មិនចុះសម្រុងនឹងគ្នា។ រូបគេរងទុក្ខវេទនា ខ្វល់ខ្វាយ មិនដឹងជាត្រូវបំពេញចិត្តមួយណាចោលមួយណា និងធ្វើយ៉ាងដូចម្ដេច ដើម្បីតម្រូវតាមចិត្តចៅហ្វាយទាំងនោះ។

បន្ទាប់ពីភស្តុតាងទាំងឡាយបានបញ្ជាក់ច្បាស់ពីវត្តមានរបស់អល់ឡោះជាម្ចាស់ និងជាព្រះតែមួយអង្គដែលគេត្រូវគោរពសក្ការៈ។ គប្បីយើងស្វែងយល់អំពីការបង្កើតរបស់ទ្រង់ចំពោះចក្រវាលនិងមនុស្សលោក និងស្វែងយល់អំពីគតិបណ្ឌិតរបស់ទ្រង់ក្នុងការបង្កើតនេះ។

# ការបង្កើតលោក

លោកីយ៍នេះមានមេឃ ផែនដី ផ្កាយ កាឡាក់ស៊ី សមុទ្រ រុក្ខជាតិ និងសព្វសត្វទាំងឡាយ គឺអល់ឡោះជាម្ចាស់ទ្រង់បានបង្កើតពីគ្មានឱ្យមាន ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ قُلْ أَئِنَّكُمْ لَتَكْفُرُونَ بِالَّذِي خَلَقَ الْأَرْضَ فِي يَوْمَيْنِ وَتَجْعَلُونَ لَهُ أَندَادًا ۚ ذَٰلِكَ رَبُّ الْعَالَمِينَ ﴿٩﴾ وَجَعَلَ فِيهَا رَوَاسِيَ مِن فَوْقِهَا وَبَارَكَ فِيهَا وَقَدَّرَ فِيهَا أَقْوَاتَهَا فِي أَرْبَعَةِ أَيَّامٍ سَوَاءً لِّلسَّائِلِينَ ﴿١٠﴾ ثُمَّ اسْتَوَىٰ إِلَى السَّمَاءِ وَهِيَ دُخَانٌ فَقَالَ لَهَا وَلِلْأَرْضِ ائْتِيَا طَوْعًا أَوْ كَرْهًا قَالَتَا أَتَيْنَا طَائِعِينَ ﴿١١﴾ فَقَضَاهُنَّ سَبْعَ سَمَاوَاتٍ فِي يَوْمَيْنِ وَأَوْحَىٰ فِي كُلِّ سَمَاءٍ أَمْرَهَا ۚ وَزَيَّنَّا السَّمَاءَ الدُّنْيَا بِمَصَابِيحَ وَحِفْظًا ۚ ذَٰلِكَ تَقْدِيرُ الْعَزِيزِ الْعَلِيمِ ﴿١٢﴾ ﴾ سورة فصلت: ٩ - ١٢

មានន័យថា : *«ឱមូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា :» ពួកអ្នកកំពុងប្រឆាំងជំទាស់នឹងអល់ឡោះជាម្ចាស់ ដែលបានបង្កើតផែនដីក្នុងរយៈពេលពីរថ្ងៃ។ ពួកអ្នកបង្កើតដៃគូ សម្រាប់ទ្រង់ក្នុងការគោរពសក្ការៈ។ ទ្រង់គឺជាព្រះជាម្ចាស់នៃសកលលោកទាំងមូល។ ទ្រង់បានបង្កើតភ្នំទាំងឡាយជាគោលគ្រឹះសម្រាប់ទប់លំនឹងផែនដី ហើយទ្រង់បានប្រទានពរជ័យ និងបានកំណត់ស្បៀងអាហារសម្រាប់ផែនដីក្នុងរយៈពេលបួនថ្ងៃជាព័តិមានសម្រាប់អ្នកដែលសួរចង់ដឹងពីរឿងនេះ។*

*បន្ទាប់មក ទ្រង់បានយាងទៅបង្កើតមេឃ ខណៈមេឃនៅជាផ្សែងនៅឡើយ។ ទ្រង់បានមានព្រះបន្ទូលទៅកាន់មេឃនិងផែនដីថា :«ចូរស្តាប់តាមបង្គាប់យើង ទោះដោយស្ម័គ្រចិត្ត ឬដោយបង្ខំចិត្ត»។ មេឃនិងផែនដីបានឆ្លើយតបទៅទ្រង់វិញថា :« ពួកយើងកើតជាមេឃ កើត*

*ជាដីដោយស្តាប់តាមបង្គាប់ទ្រង់»។ អល់ឡោះទ្រង់បានបង្កើតមេឃប្រាំពីរជាន់ក្នុងរយៈពេលពីរថ្ងៃ។ ទ្រង់បានត្រាស់បង្គាប់មេឃជាន់នីមួយៗ តាមការសព្វព្រះទ័យនិងការបង្គាប់បញ្ជារបស់ទ្រង់ ហើយទ្រង់បានតែងលម្អមេឃលោកីយ៍ ដោយមានហ្វូងតារារះភ្លឺចែងចាំង និងមានទេវតាយាមរារាំងពួកបិសាចដែលចង់ទៅលួចស្តាប់ដំណឹងលើមេឃ»។*

នេះគឺជាក្រឹត្យក្រមកំណត់ដោយព្រះជាម្ចាស់ដ៏មហាខ្លាំងក្លា និងមហាពុទ្ធិដ៏អស្ចារ្យ ដឹងជ្រួតជ្រាបទាំងអស់»។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَوَلَمۡ يَرَ ٱلَّذِينَ كَفَرُوٓاْ أَنَّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ كَانَتَا رَتۡقٗا فَفَتَقۡنَٰهُمَاۖ وَجَعَلۡنَا مِنَ ٱلۡمَآءِ كُلَّ شَيۡءٍ حَيٍّۚ أَفَلَا يُؤۡمِنُونَ ٣٠ وَجَعَلۡنَا فِي ٱلۡأَرۡضِ رَوَٰسِيَ أَن تَمِيدَ بِهِمۡ وَجَعَلۡنَا فِيهَا فِجَاجٗا سُبُلٗا لَّعَلَّهُمۡ يَهۡتَدُونَ ٣١ وَجَعَلۡنَا ٱلسَّمَآءَ سَقۡفٗا مَّحۡفُوظٗاۖ وَهُمۡ عَنۡ ءَايَٰتِهَا مُعۡرِضُونَ ٣٢ ﴾ سورة الأنبياء: ٣٠ - ٣٢

មានន័យថា : *«តើពួកអ្នកគ្មានជំនឿមិនដឹងទេឬ?មេឃនិងផែនដីដើមឡើយជាដុំតែមួយ បន្ទាប់មកយើងបានបំបែកវាទាំងពីរ ហើយយើងបានបង្កើតអ្វីគ្រប់យ៉ាងឱ្យមានជីវិតរស់ដោយសារទឹក។ តើពួកគេពុំព្រមជឿទេឬ? យើងបានបង្កើតភ្នំនៅលើផែនដី ដើម្បីកុំឱ្យផែនដីរញ្ជួយបង្កជាគ្រោះថ្នាក់ដល់ពួកគេ ហើយបានបង្កើតឱ្យមានផ្លូវធំទូលាយ។សង្ឃឹមថាពួកគេអាចស្វែងរកការរកស៊ីចិញ្ចឹមជីវិតរបស់ពួកគេ។ យើងបានបង្កើតមេឃជាដំបូលការពារពួកគេ ហើយពួកគេនាំគ្នាងាកចេញពីសញ្ញាភស្តុតាងរបស់យើង»។*

ចក្រវាលយើងនេះ អល់ឡោះបង្កើតមកប្រកបដោយគតិបណ្ឌិតដ៏ឧត្តុង្គឧត្តម ដែលមិនអាចគណនាបាន។គ្រប់ផ្នែកទាំងអស់នៃចក្រវាលមានបង្កប់នូវគតិបណ្ឌិតដ៏ធំធេងនិងមានសញ្ញាភស្តុតាងដ៏អស្ចារ្យ។ បើសិនជាអ្នកត្រិះរិះពិចារណាចំពោះសញ្ញាភស្តុតាងណាមួយនោះ អ្នកនឹងប្រទះឃើញភាពអស្ចារ្យនៅក្នុងនោះ។ ចូរក្រឡេកមើលភាពអស្ចារ្យនៃការបង្កើតរបស់អល់ឡោះទាក់ទងនឹងរុក្ខជាតិ ដែលស្ទើរតែគ្មានស្លឹក ឫស និងផ្លែរបស់វាណាមួយដែលមិនមានប្រយោជន៍សោះនោះទេ។ ពួកវាគឺសុទ្ធតែមានផលប្រយោជន៍ដែលប្រាជ្ញារបស់មនុស្សមិនអាចពណ៌នាឱ្យអស់សេចក្តីបានឡើយ។ ចូរពិនិត្យមើលចរន្តទឹកហូរក្នុងសរសៃឫសតូចឆ្មារទន់ខ្សោយ ដែលស្ទើរតែមើលមិនឃើញ ទាល់តែមើលពិនិត្យឱ្យល្អិតល្អន់ ទើបឃើញ។ ហេតុអ្វីបានជាសរសៃឫសឆ្មារៗទាំងនេះមានថាមពលអាចស្រូបយកទឹកពីក្រោមទៅលើចិញ្ចឹមដើម និងស្លឹកបាន។ ចរន្តទឹកទាំងនោះចែកចាយ ទៅតាមតម្រូវការ និងលទ្ធភាពរបស់វា។ បន្ទាប់មកទៀត សរសៃឫសឆ្មារៗនោះបំបែកជាសរសៃល្អិតៗតទៅទៀត ដែលយើងមិនអាចមើលយល់។ ចូរពិនិត្យដំណើរចេញផ្កានៃរុក្ខជាតិពីដំណាក់កាលមួយទៅដំណាក់កាលមួយ មានការវិវឌ្ឍន៍ដូចជាគភ៌ក្នុងផ្ទៃម្តាយដែលយើងមិនអាចមើលឃើញផ្ទាល់នឹងភ្នែក។ ក្រោយពេលជ្រុះស្លឹកអស់ រុក្ខជាតិប្រៀបបាននឹងអង្កត់អុសមួយដើមគ្មានស្លឹកនិងផ្កា។ បន្ទាប់មក ព្រះជាម្ចាស់បានបង្កើតឱ្យរុក្ខជាតិនោះមានស្លឹកដុះគ្របដណ្តប់ដើម ហើយចាប់ផ្តើមលាស់ត្រួយនិងចេញផ្កា។ ស្លឹកទាំងនោះមានតួនាទីការពារផ្កានិងផ្លែពីឥទ្ធិពលនៃអាកា

សធាតុក្តៅ និងត្រជាក់ និងការពារជំងឺផ្សេងៗ។ បន្ទាប់ពីចេញផ្កាហើយ រុក្ខជាតិបានបញ្ជូនសារធាតុចិញ្ចឹមជាចំណី សម្រាប់ចិញ្ចឹមផ្កាតាមចរន្តនៃសរសៃឫសដ៏តូចឆ្មារ ប្រៀបដូចជាទារកក្នុងផ្ទៃកំពុងទទួលសារធាតុចិញ្ចឹមពីម្តាយ។ ព្រះជាម្ចាស់បានផ្តល់ការចិញ្ចឹមបីបាច់ ថែរក្សាដល់ផ្កាទាំងនោះឱ្យកើតជាផ្លែរហូតដល់ទុំ ហើយមនុស្សអាចបេះយកមកទទួលទានយ៉ាងឆ្ងាញ់ពិសារ ដែលដំបូងឡើយរុក្ខជាតិនេះ គ្រាន់តែជាអង្កត់ឈើតែប៉ុណ្ណោះ។

នៅពេលដែលអ្នកក្រឡេកមើលផែនដី តើគេបង្កើតឡើងយ៉ាងដូចម្តេច? អ្នកមើលឃើញថាផែនដីនេះជាសញ្ញាភស្តុតាងដ៏ធំវិសេសវិសាលបំផុតរបស់ព្រះជាម្ចាស់ដែលបានបង្កើត។ ទ្រង់បានបង្កើតផែនដីប្រៀបដូចជា កម្រាលដ៏រាបស្មើ លាតសន្ធឹងធំទូលាយ ងាយស្រួលសម្រាប់ឱ្យមនុស្សរស់នៅ។ ទ្រង់បានបង្កើតឱ្យមានជីវភាពរស់នៅនិងចំណីអាហារនៅលើផែនដីនេះ។ ទ្រង់បង្កើតឱ្យមានផ្លូវ សម្រាប់ឱ្យពួកគេធ្វើដំណើរនិងដឹកជញ្ជូន ហើយទ្រង់បានបង្កើតភ្នំសម្រាប់ទប់លំនឹងផែនដី។ ទ្រង់បានពង្រីកផែនដីឱ្យមានទំហំធំទូលាយផ្ទៃខាងលើសម្រាប់អ្នកនៅរស់ ហើយផ្ទៃក្រោមសម្រាប់អ្នកស្លាប់។ ចូរក្រឡេកមើលគន្លងភព ដែលមានព្រះអាទិត្យ ព្រះចន្ទ្រ ផ្កាយទាំងឡាយកំពុងធ្វើចលនា។ តើហេតុអ្វីបានជាភពទាំងឡាយមានចលនាតាមក្រឹត្យក្រមកំណត់ជាប្រព័ន្ធ។ ក្នុងប្រព័ន្ធចលនានេះមានភាពខុសគ្នារវាងយប់និងថ្ងៃ រដូវកាល អាកាសធាតុក្តៅនិងត្រជាក់។ ក្រឹត្យក្រមជាប្រព័ន្ធនេះ

មានផលប្រយោជន៍សម្រាប់គ្រប់សភាវៈទាំងឡាយគ្រប់ប្រភេទដែលរស់នៅលើផែនដី ទាំងសត្វនិងរុក្ខជាតិ។

ចូរពិនិត្យសង្កេតមើលការបង្កើតមេឃ ក្រឡេកមើលម្តងហើយម្តងទៀត អ្នកនឹងឃើញថា មេឃគឺជាសញ្ញាភស្តុតាងដ៏ឧត្តុង្គឧត្តមបំផុតទាំងកម្ពស់ ទំហំ និងភាពមាំមួនរបស់វា។ វាគ្មានសសរជាទម្រគ្មានទម្ពក់ព្យួរ។ ក៏ប៉ុន្តែវាឋិតនៅមាំមួនដោយអានុភាពរបស់អល់ឡោះដែលទ្រង់ជាអ្នករក្សាមេឃនិងផែនដីមិនឱ្យមានការរង្គោះរង្គើ។

នៅពេលដែលអ្នកសម្លឹងមើលពិភពលោកនិងធាតុផ្សំរបស់វាប្រព័ន្ធរបស់វាដែលសុក្រឹតឥតខ្ចោះគឺសុទ្ធតែជាភស្តុតាងបញ្ជាក់ពីអានុភាពដ៏មហិមារឥតខ្ចោះរបស់អល់ឡោះ និងមហាពុទ្ធិរបស់ទ្រង់ក្នុងការបង្កើត។ ម្យ៉ាងទៀត បង្ហាញពីគតិបណ្ឌិត ភាពល្អិតល្អន់ និងភាពម៉ត់ចត់របស់ទ្រង់ដ៏ពេញលេញ ប្រៀបដូចជាផ្ទះមួយខ្នងដែលគេសាងសង់ឡើងយ៉ាងពេញលក្ខណៈ មាំមួនគ្មានខ្វះចន្លោះត្រង់ណាឡើយ។ មេឃមានដំបូលខ្ពស់ផុតពីផែនដី ហើយផែនដីប្រៀបបានដូចជាកម្រាលរាបស្មើរសម្រាប់សត្វលោករស់នៅ។ ព្រះអាទិត្យ ព្រះចន្ទ្រជាចង្កៀងបំភ្លឺភពផែនដី ផ្កាយទាំងឡាយជាអំពូលបំភ្លឺ និងជាគ្រឿងតុបតែងលម្អសម្រាប់ផែនដី និងជាសញ្ញាបង្ហាញផ្លូវសម្រាប់អ្នកដំណើរផងដែរ។ លើសពីនេះ ភពផែនដីពោរពេញទៅដោយវត្ថុមានតម្លៃ រ៉ែសព្វបែបយ៉ាងដែលបង្កប់នៅក្រោមដីប្រៀបបាននឹងស្បៀងអាហារដែលគេស្តុកទុក។ អ្វីៗគ្រប់បែបយ៉ាងសុទ្ធតែមានប្រយោជន៍សម្រាប់ផែនដីរុក្ខជាតិគ្រប់ប្រភេទសម្រាប់ប្រើប្រាស់ជាអត្ថប្រយោជន៍ផ្សេងៗ សត្វ

គ្រប់ប្រភេទសម្រាប់បម្រើផលប្រយោជន៍ដល់ភពផែនដីដូចជា ទុកធ្វើជាយានជំនិះ រឺតយកទឹកដោះ យកសាច់ជាចំណីអាហារ យករោមនិងស្បែកធ្វើជាសម្លៀកបំពាក់ ហើយសត្វខ្លះទៀតអាចយកធ្វើជាឆ្មាំការពារ។ ទ្រង់បានបង្កើតមនុស្ស ប្រៀបដូចជាស្តេចគ្រប់គ្រងផែនដីតំណាងឱ្យព្រះជាម្ចាស់ មានសិទ្ធិចាត់ចែងការងារគ្រប់គ្រងតាមការបង្គាប់បញ្ជារបស់ទ្រង់។

បើសិនជាអ្នកពិនិត្យឱ្យស៊ីជម្រៅទៅលើពិភពលោកទាំងមូលឬជ្រុងណាមួយ អ្នកនឹងមើលឃើញភាពអស្ចារ្យរបស់វា។ បើសិនជាអ្នកពិនិត្យឱ្យម៉ត់ចត់ មើលដោយជំហរអព្យាក្រឹត សុចរិត ជ្រះស្អាតពីចំណងកិលេសនិងប្រពៃណីនិយមនោះ អ្នកនឹងមានការជឿជាក់យ៉ាងច្បាស់ថាពិភពលោកនេះមានព្រះជាអ្នកបង្កើត ទ្រង់ជាព្រះដែលប្រកបដោយគតិបណ្ឌិត អានុភាពខ្លាំងក្លា និងមានពុទ្ធិយល់ដឹងខ្ពង់ខ្ពស់។ ទ្រង់កំណត់ក្រឹត្យក្រម រៀបចំពិភពលោកឱ្យមានរបៀបជាប្រព័ន្ធ។ ម៉្យាងវិញទៀត ព្រះជាម្ចាស់មិនអាចមានពីរអង្គជាដាច់ខាត។ ក៏ប៉ុន្តែមានព្រះតែមួយគត់។ គ្មានព្រះណាផ្សេងក្រៅពីទ្រង់ឡើយ។ បើសិនជានៅលើមេឃនិងនៅលើផែនដីនេះ មានព្រះផ្សេងក្រៅពីអល់ឡោះនោះ មេឃនិងផែនដីនឹងត្រូវវិនាសមហន្តរាយ ប្រព័ន្ធគ្រប់គ្រងពិភពលោកត្រូវរងការខូចខាត ហើយផលប្រយោជន៍ទាំងឡាយនឹងត្រូវអសកម្ម។

បើសិនជាអ្នកនៅតែប្រកែកថា គ្មានព្រះបង្កើតលោកនោះ ចុះអ្នកនិយាយយ៉ាងម៉េចទៅវិញ ចំពោះទូម៉ាស៊ីនបូមទឹករាងមូលទ្រវែង

នៅក្បែរទន្លេដែលគេផលិតនិងដំឡើងម៉ាស៊ីនយ៉ាងល្អឥតខ្ចោះ? ឧបករណ៍ប្រើប្រាស់សម្រាប់គ្រឿងម៉ាស៊ីននេះ គេបានវាស់ស្ទង់និងកំណត់មុខងារវាយ៉ាងច្បាស់លាស់។ គ្មានចំណុចណាខ្វះខាតទាំងគ្រឿងបរិក្ខានិងទ្រង់ទ្រាយរបស់វា។ មួយវិញទៀត នៅក្នុងចម្ការមានដាំដើមឈើគ្រប់ប្រភេទ ហើយម៉ាស៊ីននោះបូមទឹកស្រោចស្រប់គ្រប់គ្រាន់មិនដែលខកខាន មានអ្នកសម្អាតដី មានអ្នកប្រមូលកាកសំណល់ មានអ្នកថែទាំចម្ការគ្រប់ផ្នែកទាំងអស់។ ចម្ការនេះមិនដែលរងផលប៉ះពាល់ ហើយក៏គ្មានអ្វីធ្វើឱ្យខូចខាតដល់ផ្លែឈើទាំងនោះដែរ។ គេបានកំណត់តម្លៃក្បាលដីចម្ការនីមួយៗទៅតាមតម្រូវការអ្នកទិញ តាមប្រភេទផ្លែឈើ។

តើអ្នកយល់ថា នេះវាអាចកើតឡើងព្រមគ្នាដោយគ្មានអ្នកធ្វើ គ្មានអ្នកបង្កើត និងគ្មានអ្នករៀបចំទេឬ? គេទទួលស្គាល់ថា ពិតជាមានទូម៉ាស៊ីនបូមទឹកនិងចម្ការនោះមែន តែមិនទទួលស្គាល់ថា មានអ្នកធ្វើ មានអ្នករៀបចំ។ តើអ្នកគិតយ៉ាងដូចម្តេច បើសិនជាគេថាដូច្នោះ? តើអ្នកគិតយ៉ាងម៉េចដែរ? តើអ្នកយល់ឃើញយ៉ាងម៉េចដែរ?

# ហេតុផលនៃការបង្កើតលោក

បន្ទាប់ពីដើរត្រាច់ចរនិងត្រិះរិះពិចារណាអំពីការបង្កើតលោក យើងគប្បីលើកឡើងអំពីហេតុផល ដែលអល់ឡោះជាម្ចាស់បង្កើតលោកដ៏ធំមហាសាលនិងភស្តុតាងមហាអស្ចារ្យ ក្នុងនោះមានដូចជាៈ

១. សម្រួលអ្វីគ្រប់យ៉ាងដើម្បីមនុស្សលោកៈ នៅពេលអល់ឡោះជាម្ចាស់ទ្រង់សម្រេចព្រះទ័យបង្កើតអ្នកគ្រប់គ្រងផែនដីដែលគោរពសក្ការៈចំពោះទ្រង់ និងដើម្បីកសាងស្ថាបនាផែនដី ទ្រង់បានបង្កើតសម្រាប់ពួកគេនូវអ្វីគ្រប់យ៉ាងដើម្បីទ្រទ្រង់ជីវិត និងការរស់នៅរបស់ពួកគេឱ្យបានត្រឹមត្រូវ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ وَسَخَّرَ لَكُم مَّا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلْأَرْضِ جَمِيعًا مِّنْهُ ﴾ سورة الجاثية: ١٣

មានន័យថា : «*ទ្រង់បានសម្រួលដល់ពួកអ្នកឱ្យទាញយកផលប្រយោជន៍ពីអ្វីដែលនៅលើមេឃនិងអ្វីដែលនៅលើផែនដី។ ទាំងអស់នេះជាការប្រទានមកអំពីទ្រង់*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ ٱللَّهُ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءً فَأَخْرَجَ بِهِۦ مِنَ ٱلثَّمَرَٰتِ رِزْقًا لَّكُمْ ۖ وَسَخَّرَ لَكُمُ ٱلْفُلْكَ لِتَجْرِيَ فِي ٱلْبَحْرِ بِأَمْرِهِۦ ۖ وَسَخَّرَ لَكُمُ ٱلْأَنْهَٰرَ ﴿٣٢﴾ وَسَخَّرَ لَكُمُ ٱلشَّمْسَ وَٱلْقَمَرَ دَآئِبَيْنِ ۖ وَسَخَّرَ لَكُمُ ٱلَّيْلَ وَٱلنَّهَارَ ﴿٣٣﴾ وَءَاتَىٰكُم مِّن كُلِّ مَا سَأَلْتُمُوهُ ۚ وَإِن تَعُدُّوا۟ نِعْمَتَ ٱللَّهِ لَا تُحْصُوهَآ ۗ إِنَّ ٱلْإِنسَٰنَ لَظَلُومٌ كَفَّارٌ ﴿٣٤﴾ ﴾ سورة إبراهيم: ٣٢-٣٤

មានន័យថា : *«អល់ឡោះជាម្ចាស់បានបង្កើតមេឃទាំងប្រាំពីរជាន់និងផែនដី ហើយទ្រង់បានបញ្ចុះទឹកពីលើមេឃ។ ដោយសារទឹកភ្លៀងនេះធ្វើឱ្យរុក្ខជាតិមានផលានុផលជាគ្រឿងទ្រទ្រង់ជីវភាពរស់នៅរបស់ពួកអ្នក។ ទ្រង់បានសម្រួលដល់ពួកអ្នក ឱ្យមានទូក កប៉ាល់ អាចបើកបរលើទឹកនៅសមុទ្រតាមការបង្គាប់របស់អល់ឡោះជាម្ចាស់។ ទ្រង់បានសម្រួលដល់ពួកអ្នក ឱ្យចេះទាញយកផលប្រយោជន៍ពីទឹកទន្លេ។ ទ្រង់ប្រទានជូនពួកអ្នក តាមតែអ្វីដែលពួកអ្នកបួងសួងសុំទ្រង់។ បើសិនជាពួកអ្នកគណនាពរជ័យរបស់អល់ឡោះ គឺពួកអ្នកមិនអាចគណនាបានជាដាច់ខាត។ ពិតណាស់ មនុស្សលោកភាគច្រើនតែងតែប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះខ្លួនឯង ហើយជំទាស់នឹងពរជ័យរបស់អល់ឡោះ»*។

២. ពិតណាស់ មេឃ ដីនិងអ្វីៗទាំងអស់នៅលើលោកនេះ ជាសាក្សីបញ្ជាក់ពីភាពជាព្រះជាម្ចាស់របស់ទ្រង់ ហើយជាភស្តុតាងបញ្ជាក់ពីភាពមានតែមួយរបស់ទ្រង់ ពីព្រោះបញ្ហាសំខាន់បំផុតនៅក្នុងលោកគឺការទទួលស្គាល់ភាពជាព្រះជាម្ចាស់របស់អល់ឡោះ និងមានជំនឿចំពោះភាពជាព្រះតែមួយគត់របស់ទ្រង់។ ទ្រង់បានបង្ហាញសាក្សី និងបានផ្តល់សញ្ញាភស្តុតាងដ៏ធំធេងបំផុត ហើយទ្រង់បានផ្តល់អំណះអំណាងដ៏ពិសេសបំផុត។ អល់ឡោះជាម្ចាស់ ទ្រង់បានបង្កើតមេឃ បង្កើតដីនិងបង្កើតអ្វីៗទាំងឡាយ ជាសាក្សីបញ្ជាក់ពីរឿងនេះ។ ដូច្នេះ ទើបក្នុងគម្ពីរអាល់គួរអានមានពណ៌នាច្រើនអំពីរឿងនេះ ដូចជា៖

﴿ وَمِنۡ ءَايَٰتِهِۦٓ ﴾ سورة الروم: ٤٦

មានន័យថា : *«អំពីសញ្ញាភស្តុតាងរបស់ទ្រង់»*។

ទ្រង់បានមានព្រះបន្ទូលទៀតថា ៖

﴿ وَمِنۡ ءَايَٰتِهِۦ خَلۡقُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ ﴾ سورة الشورى: ٢٩

មានន័យថា ៖*«អំពីសញ្ញាភស្តុតាងរបស់ទ្រង់គឺការបង្កើតមេឃនិងដី»។*

﴿ وَمِنۡ ءَايَٰتِهِۦ يُرِيكُمُ ٱلۡبَرۡقَ خَوۡفٗا وَطَمَعٗا ﴾ سورة الروم: ٢٤

មានន័យថា ៖ *«អំពីសញ្ញាភស្តុតាងរបស់ទ្រង់គឺទ្រង់បង្ហាញឱ្យពួកអ្នកឃើញផ្លេកបន្ទោរ ពួកអ្នកខ្លាចរន្ទះបាញ់និងប្រាថ្នាចង់បានទឹកភ្លៀង»។*

﴿ وَمِنۡ ءَايَٰتِهِۦٓ أَن تَقُومَ ٱلسَّمَآءُ وَٱلۡأَرۡضُ بِأَمۡرِهِۦ ﴾ سورة الروم: ٢٥

មានន័យថា ៖ *«អំពីសញ្ញាភស្តុតាងរបស់ទ្រង់ គឺមេឃនិងផែនដីឋិតនៅគង់វង្ស តាមបទបញ្ជារបស់ទ្រង់»។*

៣. វាជាសាក្សីបញ្ជាក់ពីថ្ងៃរស់ឡើងវិញ៖ ជាការពិតណាស់ ជីវិតមានពីរ គឺជីវិតលោកីយ៍ និងជីវិតបរលោក ហើយជីវិតបរលោកជាជីវិតរស់នៅពិតប្រាកដ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ وَمَا هَٰذِهِ ٱلۡحَيَوٰةُ ٱلدُّنۡيَآ إِلَّا لَهۡوٞ وَلَعِبٞۚ وَإِنَّ ٱلدَّارَ ٱلۡأٓخِرَةَ لَهِيَ ٱلۡحَيَوَانُۚ لَوۡ كَانُواْ يَعۡلَمُونَ ٦٤ ﴾ سورة العنكبوت: ٦٤

មានន័យថា ៖ *«ជីវិតលោកីយ៍នេះ គ្មានអ្វីក្រៅពីការលេងសើចសប្បាយ ហើយឋានបរលោកនោះទេដែលជាជីវិតរស់នៅយ៉ាងពិតប្រាកដ។ បើសិនជាពួកគេដឹងពីរឿងនេះ ពួកគេនឹងមិនឱ្យតម្លៃលោកីយ៍នេះជាងបរលោកនោះឡើយ»។*

លោកខាងមុខជាកន្លែងដែលទទួលបាននូវការជំនុំជម្រះ និងការតបស្នង ជាជីវិតសោយសុខអមតៈ ហើយក៏ជាជីវិតដែលនឹងរងទារុណកម្មដ៏អមតៈដែរ។

ដោយហេតុថាឋានបរលោកនេះមនុស្សនឹងមិនអាចឈានទៅដល់នោះទេ លុះត្រាតែគេស្លាប់ ហើយព្រះនឹងបង្កើតគេឱ្យរស់ឡើងវិញ ក្រោយពេលស្លាប់។ ចំពោះអ្នកដែលដាច់ទំនាក់ទំនងជាមួយនឹងព្រះជាម្ចាស់ និស្ស័យពីកំណើតរបស់គេដើរថយក្រោយ ហើយបញ្ញារបស់គេក៏អន់។ គេនឹងប្រកែកជំទាស់ចំពោះរឿងនេះ។ ដូច្នេះ ទើបអល់ឡោះជាម្ចាស់ទ្រង់បានបង្ហាញអំណះអំណាង និងភស្តុតាងជាច្រើន ដើម្បីឱ្យមនុស្សមានជំនឿនឹងថ្ងៃរស់ឡើងវិញ ហើយចិត្តរបស់គេមានការជឿជាក់ ពីព្រោះការបង្កើតឡើងវិញងាយស្រួលជាងការបង្កើតលើកដំបូង។ មិនតែប៉ុណ្ណោះ ការបង្កើតមេឃនិងផែនដីធំធេងជាងការបង្កើតមនុស្សឱ្យរស់ឡើងវិញ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَهُوَ ٱلَّذِى يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ وَهُوَ أَهۡوَنُ عَلَيۡهِ ﴾ سورة الروم: ٢٧

មានន័យថា : *«អល់ឡោះជាម្ចាស់ ទ្រង់ជាអ្នកដែលចាប់ផ្តើមបង្កើត បន្ទាប់មកទ្រង់នឹងបង្កើតឡើងវិញ ហើយវាងាយស្រួលជាទីបំផុតចំពោះទ្រង់»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ لَخَلۡقُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ أَكۡبَرُ مِنۡ خَلۡقِ ٱلنَّاسِ ﴾ سورة غافر: ٥٧

មានន័យថា : *«ជាការពិតណាស់ ការបង្កើតមេឃនិងផែនដី ធំធេងជាងការបង្កើតមនុស្ស»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ ٱللَّهُ ٱلَّذِى رَفَعَ ٱلسَّمَٰوَٰتِ بِغَيۡرِ عَمَدٖ تَرَوۡنَهَاۖ ثُمَّ ٱسۡتَوَىٰ عَلَى ٱلۡعَرۡشِۖ وَسَخَّرَ ٱلشَّمۡسَ وَٱلۡقَمَرَۖ كُلّٞ يَجۡرِى لِأَجَلٖ مُّسَمّٗىۚ يُدَبِّرُ ٱلۡأَمۡرَ يُفَصِّلُ ٱلۡأٓيَٰتِ لَعَلَّكُم بِلِقَآءِ رَبِّكُمۡ تُوقِنُونَ ٢ ﴾ سورة الرعد: ٢

មានន័យថា : «*អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ខ្ពស់ផុតពីដីតាមអានុភាពរបស់ទ្រង់ដោយគ្មានសសរដូចពួកអ្នកបានឃើញផ្ទាល់នឹងភ្នែក។ បន្ទាប់មកទ្រង់គង់លើបល្ល័ង្ក។ ការគង់ដែលសក្តិសមនឹងព្រះកិត្តិនាមរបស់ទ្រង់។ ទ្រង់បានបង្កើតព្រះអាទិត្យ ព្រះចន្ទ្រសម្រាប់បម្រើផលប្រយោជន៍ដល់មនុស្សលោក។ ភពទាំងពីរកំពុងធ្វើចលនាតាមគន្លងរបស់វា រហូតថ្ងៃបរលោកមកដល់។ ទ្រង់ជាអ្នករៀបចំចាត់ចែងកិច្ចការលោកិយ៍និងបរលោក។ ទ្រង់ស្រាយបំភ្លឺភស្តុតាងទាំងឡាយ ដែលបញ្ជាក់ពីអានុភាពរបស់ទ្រង់។ សង្ឃឹមថា ពួកអ្នកមានភាពជឿជាក់ចំពោះថ្ងៃដែលពួកអ្នកនឹងទៅជួបព្រះជាម្ចាស់របស់ពួកអ្នក*»។



## ឱមនុស្សលោកទាំងឡាយ !

បើសិនជាព្រះជាម្ចាស់បង្កើតពិភពលោកមក ដើម្បីជាប្រយោជន៍សម្រាប់អ្នក។ បើសិនជាអ្នកក្រឡេកមើលសញ្ញាភស្តុតាង អំណះអំណាង និងសាក្សីទាំងឡាយនៅចំពោះមុខ អ្នកនឹងទទួលស្គាល់ថាគ្មានព្រះជាម្ចាស់ដែលគេត្រូវគោរពសក្ការៈយ៉ាងពិតប្រាកដ ក្រៅពីអល់ឡោះឡើយ ហើយទ្រង់គ្មានដៃគូ។ បើសិនជាអ្នកដឹងថា ការបង្កើតឱ្យរស់ឡើងវិញ និងការរស់ឡើងវិញបន្ទាប់ពីស្លាប់ វាងាយស្រួលជាងការបង្កើតមេឃទាំងប្រាំពីរជាន់និងផែនដី ហើយអ្នកនឹងជួបព្រះជាម្ចាស់របស់អ្នក ទ្រង់នឹងជំនុំជម្រះតាមទង្វើរបស់អ្នក។ បើសិនជាអ្នក

ដឹងថា ពិភពលោកទាំងមូលគោរពសក្ការៈចំពោះព្រះជាម្ចាស់ ហើយសត្វលោកទាំងឡាយកំពុងតែសូត្រធមិលើកតម្កើងទ្រង់ដោយក្ដីសរសើរនិងដឹងគុណចំពោះទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ يُسَبِّحُ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلْأَرْضِ ﴾ سورة الجمعة: ١

មានន័យថា : *«អ្វី១គ្រប់បែបយ៉ាងនៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើផែនដីកំពុងសូត្រធមិលើកតម្កើងដល់អល់ឡោះជាម្ចាស់»*។

សត្វលោកទាំងឡាយក្រាបបង្គំគោរពលើកតម្កើងដល់ទ្រង់ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ أَلَمْ تَرَ أَنَّ ٱللَّهَ يَسْجُدُ لَهُۥ مَن فِي ٱلسَّمَٰوَٰتِ وَمَن فِي ٱلْأَرْضِ وَٱلشَّمْسُ وَٱلْقَمَرُ وَٱلنُّجُومُ وَٱلْجِبَالُ وَٱلشَّجَرُ وَٱلدَّوَآبُّ وَكَثِيرٌ مِّنَ ٱلنَّاسِ ۖ وَكَثِيرٌ حَقَّ عَلَيْهِ ٱلْعَذَابُ ﴾ سورة الحج: ١٨

មានន័យថា : *«ឱមូហាំម៉ាត់ តើអ្នកដឹងទេ? រាល់អ្វី១នៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើផែនដី ព្រះអាទិត្យ ព្រះចន្ទ ផ្កាយទាំងឡាយ ភ្នំ ដើមឈើ សត្វទាំងឡាយកំពុងក្រាបថ្វាយបង្គំគោរព លើកតម្កើងដល់អល់ឡោះ។ មនុស្សភាគច្រើននៃពួកអ្នកដែលមានជំនឿក៏ក្រាបថ្វាយបង្គំចំពោះយើងផងដែរ។ជាមួយនោះមានមនុស្សភាគច្រើនដែលគ្មានជំនឿត្រូវព្រះលិខិតកំណត់ឱ្យចុះនរកទទួលរងនូវទារុណកម្ម»*

។

មិនតែប៉ុណ្ណោះសត្វលោកទាំងនេះកំពុងថ្វាយបង្គំចំពោះព្រះជាម្ចាស់តាមរបៀបរបស់វា។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَلَمۡ تَرَ أَنَّ ٱللَّهَ يُسَبِّحُ لَهُۥ مَن فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَٱلطَّيۡرُ صَٰٓفَّٰتٖۖ كُلّٞ قَدۡ عَلِمَ صَلَاتَهُۥ وَتَسۡبِيحَهُۥ ﴾سورة النور: ٤١

មានន័យថា ៖ *«ឱមូហាំម៉ាត់ តើអ្នកដឹងទេ? រាល់អ្វីៗទាំងអស់នៅលើមេឃទាំងប្រាំពីរជាន់ និងលើផែនដី និងសត្វបក្សាបក្សីទាំងឡាយសំកាំងស្លាបនៅលើវេហាស៍ កំពុងសូត្រធមិតម្កើងដល់អល់ឡោះជាម្ចាស់។ រាល់សត្វលោកទាំងអស់ អល់ឡោះជាម្ចាស់ទ្រង់ចង្អុលបង្ហាញរបៀបថ្វាយបង្គំនិងការសូត្រធមិតាមនិស្ស័យរបស់ពួកវា»។*

បើសិនជាខ្លួនប្រាណរបស់អ្នក ក៏គោរពតាមក្រឹត្យក្រមរបស់ទ្រង់តាមព្រះលិខិតកំណត់ និងការចាត់ចែងរបស់អល់ឡោះ។ បេះដូង សួតទាំងពីរ ថ្លើម និងអវយវៈរាងកាយទាំងអស់ស្តាប់បង្គាប់ព្រះជាម្ចាស់គោរពតាមការចង្អុលបង្ហាញរបស់ទ្រង់។ ទ្រង់បានផ្តល់ឱ្យអ្នកមានជម្រើស។ តើព្រោះតែជម្រើសរបស់អ្នករវាងជំនឿ និងការបដិសេធជំនឿឬ ដែលអ្នកសុខចិត្តជ្រើសយកផ្ទុយពីក្បួនដំណើរដ៏មានពរជ័យសិរីសួស្តីនៃពិភពលោកជុំវិញអ្នក ព្រមទាំងរូបកាយរបស់អ្នកផងនោះ?

ពិតណាស់ មនុស្សដែលមានបញ្ញាពេញលក្ខណៈតែងតែបញ្ចៀសខ្លួនឯងមិនឱ្យក្លាយជាបុគ្គលដែលធ្វើផ្ទុយពីពិភពលោកដ៏មហាធំទូលំទូលាយនេះ។

# ការបង្កើត និងការលើកតម្កើងមនុស្សលោក

អល់ឡោះជាម្ចាស់ទ្រង់បានសម្រេចព្រះទ័យ បង្កើតសត្វលោកដែលមានសមត្ថភាពក្នុងការស្ថាបនាកសាងភពផែនដី ហើយសត្វលោកនោះ គឺជាមនុស្សលោកហ្នឹងឯង។ គតិបណ្ឌិតរបស់ទ្រង់តម្រូវឱ្យការបង្កើតមនុស្សលោកពីធាតុដី។ ទ្រង់បានចាប់ផ្តើមបង្កើតមនុស្សពីដីឥដ្ឋ។ បន្ទាប់មកទ្រង់សូនរូបរាងមនុស្សរបស់យើងឱ្យមានលក្ខណៈល្អប្រពៃ។ លុះសូនរូបមនុស្សពេញលក្ខណៈរួច ទ្រង់បានផ្លុំព្រលឹងចូល។ ក្រោយពេលផ្លុំព្រលឹងចូល គេបានក្លាយជាមនុស្សដែលមានរូបសម្បត្តិល្អសុក្រឹតឥតខ្ចោះ ចេះមើល ចេះស្តាប់ មានចលនា ចេះនិយាយ។ បន្ទាប់មកទៀត ទ្រង់បានឱ្យមនុស្សយើងរស់នៅក្នុងឋានសួគ៌របស់ព្រះអង្គ ហើយទ្រង់បានបង្រៀនឱ្យគេចេះហៅអ្វីៗទាំងឡាយដែលគេត្រូវការ។ ទ្រង់បានអនុញ្ញាតឱ្យគេទទួលទាន សោយសុខអ្វីសព្វបែបយ៉ាងនៅក្នុងឋានសួគ៌។ ក៏ប៉ុន្តែទ្រង់បានហាមគេពីដើមឈើមួយដើម ជាការសាកល្បងរបស់ទ្រង់ចំពោះគេ។ អល់ឡោះជាម្ចាស់សព្វព្រះទ័យចង់បង្ហាញពីឋានៈ និងកិត្តិយសរបស់មនុស្ស។ ទ្រង់ក៏បានបង្គាប់ឱ្យពួកទេវតាទាំងឡាយក្រាបបង្គំចំពោះមនុស្ស។ ពួកទេវតាទាំងឡាយក៏បានក្រាបថ្វាយបង្គំមនុស្ស លើកលែងតែបិសាចប្រកែកមិនព្រមថ្វាយបង្គំដោយមានចិត្តក្រអឺតក្រទម។ ព្រះជាម្ចាស់ទ្រង់ក្រោធខឹងចំពោះបិសាចនេះយ៉ាងខ្លាំង ព្រោះតែមិនព្រមស្តាប់តាមការបង្គាប់ប្រើរបស់ទ្រង់។ ទ្រង់បានដាក់ផ្តាសាចំពោះពួកបិសាចនោះ ឱ្យប្រាសចាកពីមេត្តា

ករុណារបស់ទ្រង់ ដោយសារការក្រអឺតក្រទមចំពោះទ្រង់។ បិសាចនេះបានសុំពីព្រះជាម្ចាស់មេត្តាទុកជីវិតឱ្យគេរស់រហូតដល់ថ្ងៃបរលោក។ ទ្រង់ក៏បានយល់ព្រម។ បិសាចនេះច្រណែននឹងអាដាំ ខណៈដែលព្រះជាម្ចាស់បានលើកតម្កើងគាត់ និងពូជអំបូររបស់គាត់។ វាបានស្បថនឹងព្រះជាម្ចាស់ថា វានឹងពង្វក់ឱ្យកូនចៅអាដាំទាំងឡាយវង្វេង។ វានឹងមកពង្វក់ពីមុខផង ពីក្រោយផង ពីស្តាំផង ពីឆ្វេងផង លើកលែងតែបម្រើរបស់អល់ឡោះដែលមានចិត្តសទ្ធាជ្រះថ្លា ស្មោះត្រង់ និងមានជំនឿប្រាកដប្រជាតែប៉ុណ្ណោះ។ អល់ឡោះជាម្ចាស់បានការពារពួកគេពីល្បិចកលនិងការបោកបញ្ឆោតរបស់ពួកបិសាច។ ទ្រង់ក៏បានដាស់តឿនអាដាំឱ្យប្រុងប្រយ័ត្ន ចំពោះល្បិចកលរបស់បិសាច។ ក្រោយមកបិសាចនេះបានមកពង្វក់អាដាំ និងប្រពន្ធរបស់គាត់ហាវ៉ា ដើម្បីឱ្យពួកគាត់ទាំងពីរចេញពីឋានសួគ៌និងអាក្រាតខ្លួន បន្ទាប់ពីគេបានបិទបាំងកេរ្តិ៍ខ្មាសរបស់ពួកគាត់ទាំងពីរ។ បិសាចបានស្បថថា គេគ្មានបំណងអ្វីក្រៅពីជួយផ្តល់ដំបូន្មានល្អៗដល់អ្នកទាំងពីរនោះទេ។ គេនិយាយថា : « តាមការពិត អល់ឡោះជាម្ចាស់ទ្រង់ហាមពួកអ្នកទាំងពីរចំពោះដើមឈើនោះ ព្រោះទ្រង់មិនចង់ឱ្យពួកអ្នកទាំងពីរហូបផ្លែឈើនោះទេ។ ការហូបផ្លែឈើនោះ វានឹងធ្វើឱ្យពួកអ្នកក្លាយទៅជាពួកទេវតា ឬបានរស់នៅជាអមតៈនៅក្នុងឋានសួគ៌នេះ»។

គេទាំងពីរបានហូបផ្លែឈើដែលអល់ឡោះជាម្ចាស់ដែលបានហាមឃាត់នោះ។ ដូច្នេះការដាក់ពិន័យដំបូងបង្អស់ ដោយសារការល្មើសនឹងបទបញ្ជារបស់អល់ឡោះ គឺទ្រង់ធ្វើឱ្យខ្លួប្រាណ របស់ពួកគេ

ទាំងពីរអាក្រាត។ បន្ទាប់មកទ្រង់បានរំឭកពួកគេពីការដែលទ្រង់បានដាស់តឿនពួកគេឱ្យប្រុងប្រយ័ត្នចំពោះល្បិចកលរបស់បិសាច។ អាដាំបានបួងសួងសុំការអភ័យទោសពីព្រះជាម្ចាស់របស់ខ្លួន ហើយទ្រង់ក៏បានលើកលែងទោសឱ្យគាត់។ ទ្រង់បានជ្រើសរើសគាត់ ចង្អុលបង្ហាញគាត់ ហើយទ្រង់បង្គាប់ឱ្យគាត់ចុះពីឋានសួគ៌ដែលគាត់ធ្លាប់រស់នៅនោះមករស់នៅលើផែនដីនេះវិញ។ ផែនដីនេះជាទីស្នាក់អាស្រ័យបណ្ដោះអាសន្ន ហើយក្នុងផែនដីនេះមានទ្រព្យសម្បត្តិសម្រាប់ផ្គត់ផ្គង់ការរស់នៅមួយរយៈពេលខ្លី។ ទ្រង់បានប្រាប់អាដាំថា ទ្រង់បង្កើតគាត់ពីដី គាត់នឹងរស់នៅលើផែនដី ហើយគាត់នឹងស្លាប់ទៅវិញក្លាយជាដី។ គាត់នឹងរស់ឡើងវិញចេញពីដី។

អាដាំនិងប្រពន្ធរបស់គាត់ហាវ៉ាបានចុះមកកាន់ផែនដី និងបានបង្កើតកូនចៅបន្តពូជអំបូរ ហើយពួកគេទាំងអស់គ្នាគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់ តាមអ្វីដែលទ្រង់បានបង្គាប់ប្រើពួកគេ ហើយកាលនោះអាដាំជាណាពីរបស់ទ្រង់។

ពិតណាស់ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលប្រាប់យើងពីដំណឹងនេះថា :

﴿ وَلَقَدْ خَلَقْنَٰكُمْ ثُمَّ صَوَّرْنَٰكُمْ ثُمَّ قُلْنَا لِلْمَلَٰٓئِكَةِ ٱسْجُدُوا۟ لِءَادَمَ فَسَجَدُوٓا۟ إِلَّآ إِبْلِيسَ لَمْ يَكُن مِّنَ ٱلسَّٰجِدِينَ ﴿١١﴾ قَالَ مَا مَنَعَكَ أَلَّا تَسْجُدَ إِذْ أَمَرْتُكَ ۖ قَالَ أَنَا۠ خَيْرٌ مِّنْهُ خَلَقْتَنِى مِن نَّارٍ وَخَلَقْتَهُۥ مِن طِينٍ ﴿١٢﴾ قَالَ فَٱهْبِطْ مِنْهَا فَمَا يَكُونُ لَكَ أَن تَتَكَبَّرَ فِيهَا فَٱخْرُجْ إِنَّكَ مِنَ ٱلصَّٰغِرِينَ ﴿١٣﴾ قَالَ أَنظِرْنِىٓ إِلَىٰ يَوْمِ يُبْعَثُونَ ﴿١٤﴾ قَالَ إِنَّكَ مِنَ ٱلْمُنظَرِينَ ﴿١٥﴾ قَالَ فَبِمَآ أَغْوَيْتَنِى لَأَقْعُدَنَّ لَهُمْ صِرَٰطَكَ ٱلْمُسْتَقِيمَ ﴿١٦﴾ ثُمَّ لَءَاتِيَنَّهُم مِّنۢ بَيْنِ أَيْدِيهِمْ وَمِنْ خَلْفِهِمْ وَعَنْ أَيْمَٰنِهِمْ وَعَن شَمَآئِلِهِمْ ۖ وَلَا تَجِدُ أَكْثَرَهُمْ شَٰكِرِينَ ﴿١٧﴾ قَالَ ٱخْرُجْ

مِنْهَا مَذْءُومًا مَّدْحُورًاۖ لَّمَن تَبِعَكَ مِنْهُمْ لَأَمْلَأَنَّ جَهَنَّمَ مِنكُمْ أَجْمَعِينَ ﴿١٨﴾ وَيَٰٓـَٔادَمُ ٱسْكُنْ أَنتَ وَزَوْجُكَ ٱلْجَنَّةَ فَكُلَا مِنْ حَيْثُ شِئْتُمَا وَلَا تَقْرَبَا هَٰذِهِ ٱلشَّجَرَةَ فَتَكُونَا مِنَ ٱلظَّٰلِمِينَ ﴿١٩﴾ فَوَسْوَسَ لَهُمَا ٱلشَّيْطَٰنُ لِيُبْدِيَ لَهُمَا مَا وُۥرِيَ عَنْهُمَا مِن سَوْءَٰتِهِمَا وَقَالَ مَا نَهَىٰكُمَا رَبُّكُمَا عَنْ هَٰذِهِ ٱلشَّجَرَةِ إِلَّآ أَن تَكُونَا مَلَكَيْنِ أَوْ تَكُونَا مِنَ ٱلْخَٰلِدِينَ ﴿٢٠﴾ وَقَاسَمَهُمَآ إِنِّي لَكُمَا لَمِنَ ٱلنَّٰصِحِينَ ﴿٢١﴾ فَدَلَّىٰهُمَا بِغُرُورٍۚ فَلَمَّا ذَاقَا ٱلشَّجَرَةَ بَدَتْ لَهُمَا سَوْءَٰتُهُمَا وَطَفِقَا يَخْصِفَانِ عَلَيْهِمَا مِن وَرَقِ ٱلْجَنَّةِۖ وَنَادَىٰهُمَا رَبُّهُمَآ أَلَمْ أَنْهَكُمَا عَن تِلْكُمَا ٱلشَّجَرَةِ وَأَقُل لَّكُمَآ إِنَّ ٱلشَّيْطَٰنَ لَكُمَا عَدُوٌّ مُّبِينٌ ﴿٢٢﴾ قَالَا رَبَّنَا ظَلَمْنَآ أَنفُسَنَا وَإِن لَّمْ تَغْفِرْ لَنَا وَتَرْحَمْنَا لَنَكُونَنَّ مِنَ ٱلْخَٰسِرِينَ ﴿٢٣﴾ قَالَ ٱهْبِطُوا۟ بَعْضُكُمْ لِبَعْضٍ عَدُوٌّۖ وَلَكُمْ فِي ٱلْأَرْضِ مُسْتَقَرٌّ وَمَتَٰعٌ إِلَىٰ حِينٍ ﴿٢٤﴾ قَالَ فِيهَا تَحْيَوْنَ وَفِيهَا تَمُوتُونَ وَمِنْهَا تُخْرَجُونَ ﴿٢٥﴾

سورة الأعراف: ١١ – ٢٥

មានន័យថា : *«ប្រាកដណាស់ យើងបានប្រទានពរជ័យដល់ពួកអ្នក ដោយបង្កើតដើមកំណើតរបស់ពួកអ្នក (បិតារបស់ពួកអ្នកឈ្មោះអាដាំពីគ្មាន) ។ បន្ទាប់មក យើងបង្កើតរូបរាងរបស់ពួកអ្នកឱ្យប្រសើរជាងសត្វលោកដទៃផ្សេងទៀត។ បន្ទាប់មក យើងបានបង្គាប់ឱ្យពួកទេវតាទាំងឡាយក្រាបបង្គំចំពោះអាដាំជាការគោរពលើកតម្កើង និងចង់បង្ហាញពីតម្លៃរបស់អាដាំ។ ពួកគេក៏នាំគ្នាក្រាបថ្វាយបង្គំទាំងអស់គ្នា លើកលែងតែបិសាចប្រកែកមិនព្រមក្រាបថ្វាយបង្គំ។ ទ្រង់បានសួរថា :«តើ ហេតុអ្វីបានជាឯងមិនព្រមក្រាបបង្គំតាមអ្វីដែលយើងបង្គាប់ប្រើឯង?»។ បិសាចនោះតបវិញថា : «ខ្ញុំល្អប្រសើរជាងវា។ ទ្រង់បង្កើតខ្ញុំពីភ្លើងហើយទ្រង់បានបង្កើតវាពីដី»។ ទ្រង់បានមានព្រះបន្ទូលថា :«ចូរឯងចុះចេញពីឋានសួគ៌នេះទៅ!ហេតុអ្វីបានជាឯងហ៊ានក្រអឺតក្រទម*

*ចំពោះយើងនៅក្នុងឋានសួគ៌នេះ? ចូរឯងចុះចេញពីទីនេះ ឯងក្លាយជាអ្នកដែលត្រូវគេប្រមាថមើលងាយ»។ បិសាចបានតបវិញថា :«សូមព្រះជាម្ចាស់មេត្តាទុកជីវិតឱ្យខ្ញុំរស់ រហូតដល់ថ្ងៃបរលោក»។ ទ្រង់បានតបវិញថា :« ប្រាកដហើយ ឯងត្រូវគេទុកជីវិតឱ្យរស់រហូតដល់ថ្ងៃបរលោក»។ បិសាចបានបន្តថា : « ហេតុមកពីទ្រង់ ទើបធ្វើឱ្យខ្ញុំវង្វេង។ ដូច្នេះ ខ្ញុំនឹងប្រឹងប្រែងព្យាយាមពង្វក់មនុស្សលោកឱ្យពួកគេប្រាសចាកពីផ្លូវដ៏ត្រឹមត្រូវរបស់ទ្រង់។ មិនតែប៉ុណ្ណោះ ខ្ញុំនឹងអូសទាញពង្វក់ពួកគេពីមុខផង ពីក្រោយផង ពីស្តាំផង ពីឆ្វេងផង។ ទ្រង់នឹងទតឃើញថា ពួកគេភាគច្រើននឹងមិនដឹងគុណចំពោះព្រះអង្គ»។ ទ្រង់បានមានព្រះបន្ទូលទាំងក្តីក្រោធខឹង និងការដាក់ផ្តាសាថា :« ចូរឯងប្រញាប់ចាកចេញពីទីនេះ។ យើងនឹងដាក់ឱ្យពេញក្នុងភ្លើងនរក ខ្លួនរបស់ឯងនិងពួកអ្នកដែលដើរតាមឯងទាំងអស់។ ឱអាដាំ!ចូររស់នៅជាមួយនឹងប្រពន្ធរបស់ឯងក្នុងឋានសួគ៌នេះចុះ។ ចូរហូបអ្វីដែលអ្នកទាំងពីរចង់ហូប តែកុំទៅក្បែរដើមឈើមួយនោះឱ្យសោះ។បើសិនជាអ្នកទាំងពីរប្រព្រឹត្ត អ្នកទាំងពីរនឹងក្លាយជាអ្នកល្មើសនឹងច្បាប់របស់អល់ឡោះ»។ បិសាចបានមកល្បួង និងពង្វក់ពួកគេទាំងពីរ ដើម្បីធ្វើឱ្យពួកគេទាំងពីរអាក្រាតខ្លួនប្រាណដែលទ្រង់បានបិទបាំងរួចហើយនោះ។ បិសាចនោះបានល្បួងថា :« ព្រះជាម្ចាស់ទ្រង់ហាមឃាត់អ្នកទាំងពីរពីដើមឈើនេះ ព្រោះទ្រង់មិនចង់ឱ្យអ្នកទាំងពីរក្លាយជាពួកទេវតា ឬអ្នកទាំងពីររស់នៅអមតៈក្នុងឋានសួគ៌នេះតែប៉ុណ្ណោះ»។ បិសាចនោះបានស្បថប្រាប់ពួកគេទាំងពីរថា : «ខ្ញុំគ្មានបំណងអ្វីក្រៅពីចង់ទូន្មានឱ្យ*

*អ្នកទាំងពីរបានល្អតែប៉ុណ្ណោះ»។ បិសាចនោះបានល្បួងឱ្យគេទាំងពីរភ្លើតភ្លើន។ លុះពួកគេទាំងពីរភ្លក្សរសជាតិផ្លែឈើនោះហើយ ពួកគេអាក្រាតខ្លួន ហើយក៏ចាប់ផ្តើមបេះស្លឹកឈើឋានសួគ៌យកមកបិទបាំងរាងកាយដ៏គួរឱ្យខ្មាសនោះ។ ព្រះជាម្ចាស់ទ្រង់បានហៅពួកគេទាំងពីរថា : « នៃអ្នកទាំងពីរ! តើយើងមិនបានប្រាប់ពួកអ្នកទេថា បិសាចជាសត្រូវរបស់ពួកអ្នកទាំងពីរ?»។ ពួកគេទាំងពីរឆ្លើយតបវិញថា :« បពិត្រព្រះជាម្ចាស់ ពួកយើងទាំងពីរបានប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះខ្លួនឯង។ បើសិនជាទ្រង់មិនអភ័យទោសទេ និងមិនអាណិតមេត្តាពួកយើងទាំងពីរទេនោះ យើងនឹងក្លាយជាមនុស្សដែលខាតបង់ជាមិនខាន»។ ព្រះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា : «ចូរនាំគ្នាចុះពីឋានសួគ៌នេះទៅ ហើយពួកអ្នកនឹងក្លាយជាសត្រូវនឹងគ្នា។ សម្រាប់ពួកអ្នកលើផែនដីនេះ ជាទីស្នាក់អាស្រ័យ និងជាកន្លែងរស់នៅសោយសុខបណ្តោះអាសន្ន»។ ទ្រង់បានមានព្រះបន្ទូលទៀតថា :«នៅលើដីនេះពួកអ្នករស់នៅ។ នៅលើដីនេះពួកអ្នកស្លាប់ ហើយនៅលើដីនេះដែរ ពួកអ្នករស់ឡើងវិញម្តងទៀត»។*

នៅពេលដែលអ្នកត្រិះរិះពិចារណាអំពីភាពវិសេសវិសាល នៃការបង្កើតរបស់អល់ឡោះ ទ្រង់បានបង្កើតមនុស្សលោក ក្នុងរូបសម្បត្តិដ៏ល្អសុក្រឹតឥតខ្ចោះ។ ទ្រង់បានប្រទានដល់មនុស្សនូវបញ្ញា ចំណេះដឹងភាពប៉ិនប្រសប់ក្នុងបំណកស្រាយ ការនិយាយស្តី រូបរាង ទ្រង់ទ្រាយល្អឥតខ្ចោះ ខ្លួនប្រាណស្រស់ស្អាត ដងខ្លួនសមនឹងរូបរាង ចេះសិក្សារៀនសូត្រដោយផ្អែកលើអំណះអំណាង និងប្រើគំនិតប្រាជ្ញាត្រិះរិះរកហេតុផល

ល។ ម៉្យាងវិញទៀត មនុស្សមានសីលធម៌ខ្ពង់ខ្ពស់ និងមានសេចក្តីថ្លៃថ្នូរ ដូចជាភាពកតញ្ញូតាធម៌ ការស្តាប់បង្គាប់ និងការគោរពប្រតិបត្តិ។ តើភាពខុសគ្នាមានកម្រិតប៉ុនណារវាងស្ថានភាពរបស់មនុស្សពេលនៅជាតំណក់ទឹកកាមក្នុងស្បូនម្តាយ និងពេលដែលពួកទេវតាចូលទៅស្វាគមន៍រូបគេនៅក្នុងឋានសួគ៌? អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ فَتَبَارَكَ ٱللَّهُ أَحۡسَنُ ٱلۡخَٰلِقِينَ ١٤ ﴾ المؤمنون: ١٤

មានន័យថា : «*អល់ឡោះជាម្ចាស់ទ្រង់មហាបវរ ទ្រង់ជាអ្នកបង្កើតអ្វីៗគ្រប់យ៉ាងដ៏ប៉ិនប្រសប់ជាទីបំផុត*»។

លោកីយ៍នេះប្រៀបដូចជាភូមិដែលមនុស្សរស់នៅ ហើយរវល់រៀងៗខ្លួន ស្វែងរកផលប្រយោជន៍ ហើយអ្វីគ្រប់យ៉ាងគេបង្កើតដើម្បីបម្រើនិងបំពេញតម្រូវការរបស់មនុស្ស។ ពួកទេវតាដែលទទួលភារកិច្ចការពារមនុស្សទាំងយប់ទាំងថ្ងៃនិងទេវតាទទួលខុសត្រូវខាងទឹកភ្លៀង និងរុក្ខជាតិទទួលភារកិច្ចចាត់ចែងលាភសក្ការៈរបស់មនុស្ស និងការងារដែលទាក់ទងនឹងរឿងនេះ។ គន្លងភពទាំងឡាយទ្រង់បានបង្កើតឡើង ដើម្បីជាប្រយោជន៍ដល់មនុស្សលោក។ ព្រះអាទិត្យ ព្រះចន្ទ ផ្កាយទាំងឡាយធ្វើចលនាតាមពេលវេលាដែលបានកំណត់ជាប្រយោជន៍ដើម្បីដឹងរដូវកាលប្រមូលផលរបស់មនុស្ស។ ពិភពក្នុងលំហជួយផ្តល់ខ្យល់អាកាសបរិសុទ្ធ មានពពក មានសត្វបក្សាបក្សីហើរឆ្វែលឆ្វាត់ និងអ្វីៗផ្សេងទៀតដែលមានក្នុងលំហ។ រីឯពិភពលើដីវិញទ្រង់បង្កើតអ្វីៗគ្រប់យ៉ាង ដើម្បីសម្រួលដល់ការរស់នៅរបស់មនុស្ស

មានតាំងពីផ្ទៃដី ភ្នំ សមុទ្រ ទន្លេ ព្រៃព្រឹក្សា ឈើហូបផ្លែ រុក្ខជាតិដំណាំ សត្វគ្រប់ប្រភេទ និងអ្វីផ្សេងទៀត។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءً فَأَخْرَجَ بِهِۦ مِنَ ٱلثَّمَرَٰتِ رِزْقًا لَّكُمْ ۖ وَسَخَّرَ لَكُمُ ٱلْفُلْكَ لِتَجْرِىَ فِى ٱلْبَحْرِ بِأَمْرِهِۦ ۖ وَسَخَّرَ لَكُمُ ٱلْأَنْهَٰرَ ﴿٣٢﴾ وَسَخَّرَ لَكُمُ ٱلشَّمْسَ وَٱلْقَمَرَ دَآئِبَيْنِ ۖ وَسَخَّرَ لَكُمُ ٱلَّيْلَ وَٱلنَّهَارَ ﴿٣٣﴾ وَءَاتَىٰكُم مِّن كُلِّ مَا سَأَلْتُمُوهُ ۚ وَإِن تَعُدُّوا۟ نِعْمَتَ ٱللَّهِ لَا تُحْصُوهَآ ۗ إِنَّ ٱلْإِنسَٰنَ لَظَلُومٌ كَفَّارٌ ﴿٣٤﴾ ﴾ سورة إبراهيم: ٣٢-٣٤

មានន័យថា : *«អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃទាំងប្រាំពីរជាន់និងផែនដី ហើយទ្រង់បានបញ្ចុះទឹកពីលើមេឃ។ ដោយសារទឹកភ្លៀងនេះ ធ្វើឱ្យរុក្ខជាតិមានផលានុផលជាគ្រឿងទ្រទ្រង់ជីវភាពរស់នៅរបស់ពួកអ្នក។ ទ្រង់បានសម្រួលដល់ពួកអ្នកឱ្យមានទូក កប៉ាល់អាចបើកបរលើទឹកសមុទ្រតាមការបង្គាប់របស់អល់ឡោះជាម្ចាស់។ ទ្រង់បានសម្រួលដល់ពួកអ្នក ឱ្យចេះទាញយកផលប្រយោជន៍ពីទឹកទន្លេ។ ទ្រង់ប្រទានជូនពួកអ្នក តាមតែអ្វីដែលពួកអ្នកបួងសួងសុំចំពោះទ្រង់។ បើសិនជា ពួកអ្នកគណនាពរជ័យរបស់អល់ឡោះ គឺពួកអ្នកមិនអាចគណនាបានជាដាច់ខាត។ ពិតណាស់ មនុស្សលោកភាគច្រើនតែងតែប្រព្រឹត្តិអំពើអយុត្តិធម៌ចំពោះខ្លួនឯង ហើយជំទាស់នឹងពរជ័យរបស់អល់ឡោះ»។*

ការលើកតម្កើងរបស់ទ្រង់ចំពោះមនុស្ស គឺទ្រង់បង្កើតសម្រាប់មនុស្សនូវអ្វីៗដែលគេត្រូវការក្នុងជីវិតរស់នៅ។ ម៉្យាងទៀតទ្រង់បានផ្ត

ល់ឱ្យនូវមធ្យោបាយជាច្រើនដើម្បីឱ្យគេអាចឈានទៅកាន់ឋានៈដ៏ខ្ពង់ខ្ពស់បំផុតនៅថ្ងៃបរលោក។ ទ្រង់បានប្រទានព្រះគម្ពីរចុះមក បញ្ជូនពួកអ្នកនាំសារ ដើម្បីបកស្រាយបញ្ជាក់ពីច្បាប់របស់អល់ឡោះ និងអំពាវនាវពួកគេទៅរកព្រះអង្គ។

បន្ទាប់មក ទ្រង់បានបង្កើតប្រពន្ធរបស់គេពីខ្លួនប្រាណរបស់គេ (ខ្លួនរបស់អាដាំ) ដើម្បីឱ្យនាងរួមរស់ជាមួយគេ សម្រាប់បំពេញតម្រូវតាមបែបធម្មជាតិរបស់មនុស្ស(តម្រូវការផ្លូវចិត្ត បញ្ញា និងផ្លូវកាយ) ដែលធ្វើឱ្យរូបគេមានសេចក្ដីសុខ ស្កប់ស្កល់ នឹងធឹង។ ប្ដីប្រពន្ធរួមរស់ជាមួយគ្នាទទួលបានសេចក្ដីស្ងប់ស្កប់ស្កល់ មានចិត្តអាណិតស្រលាញ់ចំពោះគ្នាទៅវិញទៅមក។ ពីព្រោះជាតិកំណើតរបស់មនុស្សទាំងផ្លូវកាយ ផ្លូវចិត្ត និងប្រព័ន្ធប្រសាទផ្សំបញ្ចូលគ្នាបំពេញសេចក្ដីត្រូវការចំពោះគ្នាទៅវិញទៅមក។ ការរួមរស់ជាមួយគ្នា គឺដើម្បីបង្កើតមនុស្សជំនាន់ក្រោយៗទៀត។ ទ្រង់បានបង្កើតឱ្យមនុស្សមានមនោសញ្ចេតនាស្រលាញ់គ្នា ហើយទ្រង់ធ្វើឱ្យទំនាក់ទំនាក់នេះ ផ្ដល់នូវសេចក្ដីស្កប់ស្កល់ដល់ផ្លូវចិត្ត និងប្រព័ន្ធប្រសាទ។ ទាំងរូបកាយនិងចិត្តទទួលបាននូវភាពសប្បាយរីករាយ។ ម្យ៉ាងទៀតវាធ្វើឱ្យជីវិតរស់នៅរបស់គេមានភាពនឹងធឹង ព្រលឹងវិញ្ញាណរបស់គេរស់នៅមានគ្នា មានភាពកក់ក្ដៅស្ត្រីនិងបុរសមានភាពស្កប់ស្កល់ស្មើៗគ្នា។ អល់ឡោះជាម្ចាស់ទ្រង់បានប្រទានជាពិសេសដល់ពួកអ្នកមានជំនឿក្នុងចំណោមមនុស្សទូទៅ គឺទ្រង់ចាត់ទុកពួកគេជាពលរដ្ឋរបស់ទ្រង់។ ទ្រង់ប្រើឱ្យពួកគេគោរពប្រតិបត្តិចំពោះទ្រង់ និងប្រតិបត្តិតាមច្បាប់របស់ទ្រង់ដើម្បីឱ្យពួកគេ

សក្តិសមនឹងរស់នៅក្បែរព្រះជាម្ចាស់របស់ពួកគេ នៅក្នុងឋានសួគ៌។ ទ្រង់បានជ្រើសរើសពីក្នុងចំណោមពួកគេនូវអ្នកមានកុសលធម៌ អ្នកពលីជីវិត ពួកណាពី និងពួកអ្នកនាំសារ។ ទ្រង់ប្រទានដល់ពួកគេក្នុងលោកិយ៍នេះ នូវពរជ័យវិសេសវិសាលបំផុតដែលធ្វើឱ្យដួងចិត្តរបស់ពួកគេសប្បាយរីករាយ នោះគឺការគោរពសក្ការៈចំពោះទ្រង់ ការប្រណិប័តន៍ចំពោះទ្រង់ និងការបួងសួងចំពោះទ្រង់។ ទ្រង់បានប្រទានជាពិសេសដល់ពួកគេនូវពរជ័យដ៏ឧត្តុង្គឧត្តមបំផុត(ដែលអ្នកដទៃមិនដែលស្គាល់ពរជ័យនេះទេ) គឺសេចក្តីសុខ សុភមង្គល និងសេចក្តីស្ងប់ស្ងប់ស្ងាត់។ ពិសេសជាងនេះទៀត គឺពួកគេយល់ដឹងពីសច្ចភាពដែលពួកអ្នកនាំសារបាននាំមក និងមានជំនឿចំពោះសច្ចភាពនេះ។ មិនតែប៉ុណ្ណោះ ទ្រង់បានសន្យាទុកសម្រាប់ពួកគេនូវបរមសុខដ៏ស្ថិតស្ថេរអមតៈនៅថ្ងៃបរលោក និងភាពជោគជ័យដ៏ធំធេងសក្តិសមនឹងព្រះកិត្តិនាមរបស់ទ្រង់ដ៏មហាថ្លៃថ្លា។ ទ្រង់នឹងតបស្នងចំពោះជំនឿ និងចិត្តជ្រះថ្លារបស់ពួកគេ។

# ឋានៈរបស់ស្ត្រី

ស្ត្រីក្នុងឥស្លាមមានឋានៈខ្ពង់ខ្ពស់បំផុត ដែលសាសនាមុនៗពុំបានផ្តល់ឋានៈនេះដល់ស្ត្រីដូច្នេះឡើយ។ ម្យ៉ាងទៀតមនុស្សជំនាន់ក្រោយ ក៏ពុំបានផ្តល់ឋានៈឱ្យស្ត្រីដូចឥស្លាមដែរ។ ឥស្លាមបានផ្តល់តម្លៃដល់មនុស្សលោកជាស្ត្រីនិងបុរសទទួលបានចំណែកស្មើៗគ្នា។ ពួកគេមានសិទ្ធិស្មើគ្នានៅចំពោះមុខច្បាប់របស់អល់ឡោះក្នុងលោកីយ៍នេះ ហើយពួកគេនឹងទទួលបានផលបុណ្យនិងការតបស្នងស្មើគ្នាផងដែរ នៅថ្ងៃបរលោក។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَقَدْ كَرَّمْنَا بَنِيٓ ءَادَمَ ﴾ سورة الإسراء: ٧٠

មានន័យថា : *ពិតណាស់ យើងបានលើកតម្កើងកូនចៅរបស់អាដាំ។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ لِّلرِّجَالِ نَصِيبٌ مِّمَّا تَرَكَ ٱلْوَٰلِدَانِ وَٱلْأَقْرَبُونَ وَلِلنِّسَآءِ نَصِيبٌ مِّمَّا تَرَكَ ٱلْوَٰلِدَانِ وَٱلْأَقْرَبُونَ ﴾ سورة النساء: ٧

មានន័យថា : *«កូនប្រុសទទួលបានមួយចំណែកនៃទ្រព្យមតិកដែលឪពុកម្តាយនិងសាច់ញាតិបានបន្សល់ទុក ហើយកូនស្រីក៏ទទួលបានចំណែកទ្រព្យមតិកដែលឪពុកម្តាយនិងសាច់ញាតិបន្សល់ទុកដែរ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَلَهُنَّ مِثْلُ ٱلَّذِى عَلَيْهِنَّ بِٱلْمَعْرُوفِ ﴾ سورة البقرة: ٢٢٨

មានន័យថា : *«ស្ត្រីមានសិទ្ធិទៅលើប្តី ដូចប្តីមានសិទ្ធទៅលើពួកនាងដែរ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَٱلۡمُؤۡمِنُونَ وَٱلۡمُؤۡمِنَٰتُ بَعۡضُهُمۡ أَوۡلِيَآءُ بَعۡضٖ ﴾ سورة التوبة: ٧١

មានន័យថា : «*បុរសដែលមានជំនឿនិងស្ត្រីដែលមានជំនឿ ពួកគេជាអ្នកគាំទ្រគ្នាទៅវិញទៅមក*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَقَضَىٰ رَبُّكَ أَلَّا تَعۡبُدُوٓاْ إِلَّآ إِيَّاهُ وَبِٱلۡوَٰلِدَيۡنِ إِحۡسَٰنًاۚ إِمَّا يَبۡلُغَنَّ عِندَكَ ٱلۡكِبَرَ أَحَدُهُمَآ أَوۡ كِلَاهُمَا فَلَا تَقُل لَّهُمَآ أُفّٖ وَلَا تَنۡهَرۡهُمَا وَقُل لَّهُمَا قَوۡلٗا كَرِيمٗا ٢٣ وَٱخۡفِضۡ لَهُمَا جَنَاحَ ٱلذُّلِّ مِنَ ٱلرَّحۡمَةِ وَقُل رَّبِّ ٱرۡحَمۡهُمَا كَمَا رَبَّيَانِي صَغِيرٗا ٢٤ ﴾ سورة الإسراء: ٢٣ - ٢٤

មានន័យថា : «*ព្រះជាម្ចាស់របស់អ្នកបានដាក់កាតព្វកិច្ចលើពួកអ្នក មិនឱ្យគោរពប្រណិប័តន៍ លើកលែងតែចំពោះទ្រង់ និងកតញ្ញូចំពោះឪពុកម្តាយ។ ជាពិសេសពេលឪពុក ឬម្តាយ ឬគាត់ទាំងពីរចាស់ជរារស់នៅជាមួយអ្នក។ ចូរកុំគំហក និងស្តីបន្ទោសចំពោះគាត់ទាំងពីរ។ ត្រូវនិយាយពាក្យពីរោះទន់ភ្លន់ចំពោះគាត់ទាំងពីរ។ ចូរបន្ទាបខ្លួនឱនលំទោនចំពោះគាត់ទាំងពីរ ដោយការអាណិតស្រលាញ់។ ចូរបួងសួងថា :« បពិត្រព្រះជាម្ចាស់ សូមទ្រង់អាណិតស្រលាញ់ចំពោះគាត់ទាំងពីរដូចដែលគាត់ទាំងពីរធ្លាប់ចិញ្ចឹមបីបាច់ខ្ញុំកាលពីខ្ញុំនៅតូច*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ فَٱسۡتَجَابَ لَهُمۡ رَبُّهُمۡ أَنِّي لَآ أُضِيعُ عَمَلَ عَٰمِلٖ مِّنكُم مِّن ذَكَرٍ أَوۡ أُنثَىٰ ﴾ سورة آل عمران: ١٩٥

មានន័យថា : «*ព្រះជាម្ចាស់ទ្រង់បានទទួលការបួងសួងរបស់ពួកគេ។ ពិតណាស់ យើងមិនបំបាត់អំពើល្អរបស់ពួកអ្នកទាំងបុរសនិងស្ត្រី*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ مَنْ عَمِلَ صَٰلِحًا مِّن ذَكَرٍ أَوْ أُنثَىٰ وَهُوَ مُؤْمِنٌ فَلَنُحْيِيَنَّهُۥ حَيَوٰةً طَيِّبَةً ۖ وَلَنَجْزِيَنَّهُمْ أَجْرَهُم بِأَحْسَنِ مَا كَانُوا۟ يَعْمَلُونَ ﴿٩٧﴾ ﴾ سورة النحل: ٩٧

មានន័យថា : *«នរណាធ្វើអំពើល្អ ទោះអ្នកនោះជាបុរសឬស្ត្រី ហើយគេជាអ្នកមានជំនឿគឺយើងនឹងធ្វើឱ្យគេមានជីវិតរស់នៅប្រកបដោយសុភមង្គល។ នៅថ្ងៃបរលោក យើងនឹងតបស្នងផលបុណ្យយ៉ាងប្រសើរបំផុត ចំពោះអ្វីដែលគេបានប្រព្រឹត្តនៅលោកិយ៍នេះ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَمَن يَعْمَلْ مِنَ ٱلصَّٰلِحَٰتِ مِن ذَكَرٍ أَوْ أُنثَىٰ وَهُوَ مُؤْمِنٌ فَأُو۟لَٰٓئِكَ يَدْخُلُونَ ٱلْجَنَّةَ وَلَا يُظْلَمُونَ نَقِيرًا ﴿١٢٤﴾ ﴾ سورة النساء: ١٢٤

មានន័យថា : *«នរណាធ្វើអំពើល្អ ទោះជាបុរសឬស្ត្រី ហើយគេជាអ្នកមានជំនឿ គឺអ្នកទាំងនោះនឹងបានចូលឋានសួគ៌ និងមិនត្រូវបានគេលួចបំបាត់ផលបុណ្យរបស់គេ សូម្បីប៉ុនចង្អូរផ្លែល្មើ»។*

ការឱ្យតម្លៃនេះ ស្ត្រីក្នុងឥស្លាមទទួលបានភ័ព្វសំណាងណាស់ដែលគ្មានសាសនា ឬច្បាប់ធម្មនុញ្ញដទៃទៀតប្រៀបស្មើនឹងឥស្លាមឡើយ។ អរិយធម៌រ៉ូមបុរាណបានចាត់ទុកស្ត្រីជាទាសកររបស់បុរស ហើយស្ត្រីគ្មានសិទ្ធិអ្វីទាំងអស់។ មជ្ឈមណ្ឌលដ៏ធំមួយនៅទីក្រុងរ៉ូម៉ា បានប្រជុំប្រឹក្សាទាក់ទងនឹងបញ្ហាស្ត្រី ហើយបានសម្រេចថា ស្ត្រីគឺជាសភាវៈដែលគ្មានជីវិត។ ហេតុនេះ ស្ត្រីក៏ជាសភាវៈដែលគ្មានជីវិតផងដែរនៅថ្ងៃបរលោក ហើយចាត់ទុកនាងជាវត្ថុស្មោគគ្រោក។

នៅទីក្រុងអាតែន គេចាត់ទុកស្ត្រីជារបស់ដែលអាប់ឱនបំផុត។ គេយកនាងទៅលក់ដូរដោយសេរី ហើយគេចាត់ទុកនាងជាវត្ថុកខ្វក់ជាអំពើរបស់បិសាច។

ច្បាប់ឥណ្ឌាសម័យបុរាណបានសម្រេចថា ជំងឺអាសន្នរោគ សេចក្តីស្លាប់ ភ្លើងនរក ពិសពស់វែកនិងភ្លើងប្រសើរជាងស្ត្រី។ សិទ្ធិស្ត្រីត្រូវបានបាត់បង់ពេលដែលប្តីរបស់នាងស្លាប់ ព្រោះប្តីជាចៅហ្វាយរបស់នាង។ បើសិនជានាងឃើញសាកសពប្តីត្រូវគេយកទៅបូជានាងត្រូវលោតចូលក្នុងភ្នក់ភ្លើងនោះជាមួយប្តី។ បើពុំដូច្នោះទេ នាងនឹងត្រូវទទួលនូវការដាក់ផ្តាសាអស់មួយជីវិត។

រីឯស្ត្រីក្នុងសាសនាពួកជ្វីហ្វវិញក្នុងគម្ពីរសញ្ញាណចាស់បានចែងថា : «ខ្លួនខ្ញុំនិងចិត្តរបស់ខ្ញុំ ចាប់ផ្តើមចង់ដឹង ស្វែងយល់ ទាមទារចង់ដឹងពីគតិបណ្ឌិតនិងបញ្ញា ហើយខ្ញុំបានស្គាល់សេចក្តីអាក្រក់គឺអវិជ្ជា ភាពល្ងង់ខ្លៅគឺឆ្កួត។ យើងបានរកឃើញថា អ្វីដែលល្វីងជូរចត់ជាងសេចក្តីស្លាប់នោះគឺស្ត្រី ព្រោះនាងជាសំណាញ់ ចិត្តរបស់នាងជាអន្ទាក់ ហើយដៃរបស់នាងគឺខ្នោះ»។

នេះគឺជាស្ត្រីនៅសម័យបុរាណ។ រីឯស្ថានភាពរបស់ស្ត្រីនៅសម័យកណ្តាល និងសម័យទំនើបវិញ គឺសង្គមជាក់ស្តែងបានបង្ហាញពីតម្លៃស្ត្រីដូចខាងក្រោម៖

– អ្នកនិពន្ធជនជាតិដាណឺម៉ាក (Wieth Kordsten) បានបកស្រាយពីទស្សនៈរបស់វិហារ គ្រិស្តសាសនានិកាយកាតូលិកចំពោះស្ត្រីថា : « ក្នុងអំឡុងសម័យកណ្តាល ការយកចិត្តទុកដាក់ចំពោះស្ត្រី

នៅអឺរ៉ុបនៅមានកម្រិតទាបមែនទែន យោងតាមទស្សនៈរបស់និកាយកាតូលិកដែលបានចាត់ទុកស្ត្រីជាសភាវៈលំដាប់លេខពីរ»។ នៅក្នុងប្រទេសបារាំងបានបើកកិច្ចប្រជុំឆ្នាំ៥៨៦គ.ស. សិក្សាស្វែងយល់អំពីស្ត្រីជុំវិញបញ្ហាថា តើគួរចាត់ទុកស្ត្រីជាមនុស្សឬមិនមែនជាមនុស្ស? ក្រោយពេលប្រឹក្សាយោបល់រួច អង្គប្រជុំបានសម្រេចថា ស្ត្រីគឺជាមនុស្ស ក៏ប៉ុន្តែស្ត្រីជាសភាវៈសម្រាប់បម្រើបុរស។ មាត្រាទី២១៧នៃរដ្ឋធម្មនុញ្ញបានចែងថា :«ស្ត្រីមានប្តីរួច ទោះជាការរៀបអាពាហ៍ពិពាហ៍ឈរលើមូលដ្ឋាននៃការបែងចែករវាងកម្មសិទ្ធិរបស់នាងនិងកម្មសិទ្ធិរបស់ប្តីនាងក៏ដោយ មិនអនុញ្ញាតឱ្យនាងបរិច្ចាគ ឬផ្ទេរកម្មសិទ្ធិរបស់នាង ឬយកទៅបញ្ចាំទេ។ នាងមិនមានសិទ្ធិក្នុងការកាន់កាប់ជំនួស ឬមិនជំនួស ដោយគ្មានការចូលរួមពីប្តីរបស់នាងទាក់ទងនឹងកិច្ចសន្យា ឬកិច្ចព្រមព្រៀងជាលាយលក្ខណ៍អក្សរ»។

- ប្រទេសអង់គ្លេសព្រះចៅហង់រីទី ៨ បានហាមស្ត្រីអង់គ្លេសមិនឱ្យនាងសូត្រគម្ពីរពិសិដ្ឋ។ ស្ត្រីជាច្រើនគេមិនបានចាត់ទុកជាពលរដ្ឋអង់គ្លេសរហូតដល់ឆ្នាំ១៨៥០គ.ស. ហើយស្ត្រីនៅតែគ្មានសិទ្ធិបុគ្គល រហូតដល់ឆ្នាំ១៨៨២គ.ស (សៀវភៅភាគប្រៀបធៀបសាសនានិពន្ធដោយបណ្ឌិត អះម៉ាត់ ស្បាល់ពី ភាគ៣ ទំព័រ ២១០និង២១៣)។
- រីឯស្ត្រីបច្ចុប្បន្ននៅអឺរ៉ុប សហរដ្ឋអាមេរិក និងប្រទេសផ្សេងៗទៀត នៃប្រទេសឧស្សាហកម្មជឿនលឿន ស្ត្រីក៏នៅតែជាសភាវៈ

ដែលត្រូវគេប្រើប្រាស់យ៉ាងរិចរិល និងអស់តម្លៃក្នុងគោលបំណង ពាណិជ្ជកម្ម។ នាងគឺជាផ្នែកមួយ នៃការឃោសនាផ្សព្វផ្សាយ ពាណិជ្ជកម្ម។ មិនតែប៉ុណ្ណោះរហូតដល់កម្រិតបង្គាប់ឱ្យស្ត្រីដោះ សម្លៀកបំពាក់ដើម្បីកាន់បង្ហាញទំនិញនៅផ្ទាំងខាងមុខនៃការ ផ្សាយពាណិជ្ជកម្ម។ គេអនុញ្ញាតឱ្យអាក្រាតរាងកាយរបស់នាង គោរពតាមល័ក្ខខ័ណ្ឌដែលកំណត់ដោយពួកប្រុសៗ ដើម្បីបំពេញ ចំណីអារម្មណ៏របស់ពួកគេនៅគ្រប់ទីកន្លែងតែប៉ុណ្ណោះ។

ស្ត្រីជាទីចាប់អារម្មណ៏ ដរាបណានាងអាចផ្តល់ប្រយោជន៏ដោយដៃ របស់នាង គំនិតរបស់នាង និងខ្លួនប្រាណរបស់នាង។ លុះនាងធ្លាក់ខ្លួន ចាស់ អស់គុណសម្បត្តិក្នុងការផ្តល់ប្រយោជន៏ គឺនាងត្រូវសង្គមដោះដៃ លែងត្រូវការទាំងសមាជិក និងស្ថាប័នសង្គម។ នាងត្រូវរស់នៅឯកោ អនាថាក្នុងផ្ទះតែឯង ឬនៅមជ្ឈមណ្ឌលគាំពារស្ត្រីមានជំងឺផ្លូវចិត្ត។



ចូរប្រៀបធៀបរឿងទាំងនេះ(មិនដូចគ្នានោះទេ)នឹងអ្វីដែលមាន ចែងនៅក្នុងគម្ពីរអាល់គួរអានដែលអល់ឡោះជាម្ចាស់បានមានព្រះ បន្ទូលថា :

﴿ وَٱلْمُؤْمِنُونَ وَٱلْمُؤْمِنَٰتُ بَعْضُهُمْ أَوْلِيَآءُ بَعْضٍ ﴾ سورة التوبة: ٧١

មានន័យថា : *«ពួកបុរសដែលមានជំនឿ និងពួកស្ត្រីដែលមានជំនឿ ពួកគេជាអ្នកគាំទ្រគ្នាទៅវិញទៅមក»។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ وَلَهُنَّ مِثْلُ ٱلَّذِى عَلَيْهِنَّ بِٱلْمَعْرُوفِ ﴾ سورة البقرة: ٢٢٨

មានន័យថា : *«ស្ត្រីមានសិទ្ធិលើប្តី ដូចប្តីមានសិទ្ធិលើពួកនាងដែរ»។*

ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَقَضَىٰ رَبُّكَ أَلَّا تَعۡبُدُوٓاْ إِلَّآ إِيَّاهُ وَبِٱلۡوَٰلِدَيۡنِ إِحۡسَٰنًاۚ إِمَّا يَبۡلُغَنَّ عِندَكَ ٱلۡكِبَرَ أَحَدُهُمَآ أَوۡ كِلَاهُمَا فَلَا تَقُل لَّهُمَآ أُفّٖ وَلَا تَنۡهَرۡهُمَا وَقُل لَّهُمَا قَوۡلٗا كَرِيمٗا ٢٣ وَٱخۡفِضۡ لَهُمَا جَنَاحَ ٱلذُّلِّ مِنَ ٱلرَّحۡمَةِ وَقُل رَّبِّ ٱرۡحَمۡهُمَا كَمَا رَبَّيَانِي صَغِيرٗا ٢٤ ﴾ سورة الإسراء: ٢٣ - ٢٤

មានន័យថា : «*ព្រះជាម្ចាស់របស់អ្នកបានដាក់កាតព្វកិច្ចលើពួកអ្នកមិនឱ្យគោរពប្រណិប័តន៍ លើកលែងតែចំពោះទ្រង់ ហើយកតញ្ញូចំពោះឪពុកម្តាយ។ ជាពិសេសពេលឪពុក ឬម្តាយ ឬគាត់ទាំងពីរចាស់ជរារស់នៅជាមួយអ្នក។ ចូរកុំគំហកនិងស្តីបន្ទោសចំពោះគាត់ទាំងពីរ។ ត្រូវនិយាយពាក្យពីរោះទន់ភ្លន់ចំពោះគាត់ទាំងពីរ។ ចូរបន្ទាបខ្លួន ឱនលំទោនចំពោះគាត់ទាំងពីរដោយការអាណិតស្រលាញ់។ ចូរបួងសួងថា : « បពិត្រព្រះជាម្ចាស់ សូមទ្រង់អាណិតស្រលាញ់ចំពោះគាត់ទាំងពីរ ដូចដែលគាត់ទាំងពីរធ្លាប់ចិញ្ចឹមបីបាច់ខ្ញុំកាលខ្ញុំនៅតូច*»។

ខណៈដែលព្រះជាម្ចាស់បានផ្តល់តម្លៃនិងលើកតម្កើងដល់ស្ត្រី គឺទ្រង់បានបញ្ជាក់ប្រាប់មនុស្សទូទៅថា ទ្រង់បានបង្កើតនាងជាម្តាយ ជាប្រពន្ធ ជាបុត្រធីតា ជាបងប្អូនស្រី។ ទ្រង់បានដាក់ច្បាប់ជាពិសេសសម្រាប់ស្ត្រីដែលមិនមែនសម្រាប់បុរស។

# គតិបណ្ឌិតនៃការបង្កើតមនុស្ស

អល់ឡោះជាម្ចាស់ទ្រង់មានគតិបណ្ឌិតដែលបញ្ញារបស់មនុស្សគិតមិនដល់ ហើយគ្មានភាសាណាអាចពិពណ៌នាបានដែរ។ យើងនឹងបង្ហាញក្នុងកថាខណ្ឌនេះអំពីគតិបណ្ឌិតមួយចំនួនដូចខាងក្រោម៖

១. អល់ឡោះជាម្ចាស់ទ្រង់មានព្រះនាមដ៏ល្អប្រពៃ។ អំពីព្រះនាមរបស់ទ្រង់គឺ ព្រះមហាអភ័យទោស(الغفور) ព្រះមហាមេត្តា (الرحيم) ព្រះមហាអត់ឱន (العفو) ព្រះមហាអត់ធ្មត់ (الحليم)...។ ចាំបាច់ត្រូវបង្ហាញនូវឥទ្ធិពលនៃព្រះនាមទាំងឡាយរបស់ទ្រង់។ ដូច្នេះគតិបណ្ឌិតរបស់ទ្រង់បាន តម្រូវឱ្យអាដាំនិងកូនចៅរបស់គាត់ ចុះមកនៅលើផែននេះ ព្រោះទ្រង់ចង់លាតត្រដាងឱ្យពួកគេឃើញពីឥទ្ធិពលនៃព្រះនាមទាំងឡាយរបស់ទ្រង់។ ទ្រង់អភ័ទោសចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ។ ទ្រង់អាណិតមេត្តាចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ។ ទ្រង់អត់ឱនចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ។ ទ្រង់អត់ធ្មត់ចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ។ល។ ទាំងនេះគឺទ្រង់ចង់បង្ហាញពីឥទ្ធិពលនៃព្រះនាមនិងព្រះលក្ខណៈសម្បត្តិទាំងឡាយរបស់ទ្រង់។

២.អល់ឡោះជាម្ចាស់ទ្រង់ជាស្តេចពិតប្រាកដ។ ទ្រង់ជាអ្នកបង្គាប់បញ្ជានិងហាមឃាត់។ ទ្រង់ជាអ្នកប្រទានផលបុណ្យនិងដាក់ទណ្ឌកម្មពិន័យ។ ទ្រង់ជាអ្នកលើកតម្កើង និងជាអ្នកធ្វើឱ្យអាប់ឱន។ ទ្រង់ជាអ្នកផ្តល់ឥស្សរភាព ជាអ្នកដកយកឥស្សរភាព។ អំណាចរបស់ទ្រង់បានតម្រូវឱ្យអាដាំ និងកូនចៅរបស់គាត់ ចុះមករស់នៅលើដីនេះ ដើម្បីអនុ

វត្តតាមច្បាប់របស់ទ្រង់ ហើយបញ្ជូនពួកគេត្រលប់ទៅកាន់ឋានសួគ៌វិញ ដែលទ្រង់នឹងតបស្នងជូនពួកគេតាមអំពើដែលពួកគេបានសាងនៅលើលោកនេះ។

៣. អល់ឡោះជាម្ចាស់ ទ្រង់សព្វព្រះទ័យចង់ជ្រើសរើសក្នុងចំណោមពួកគេ នូវណាពី ពួកអ្នកនាំសារ អ្នកមានកុសលធម៌ អ្នកពលីជីវិត។ ទ្រង់សព្វព្រះទ័យចំពោះពួកគេ ហើយពួកគេក៏ស្រលាញ់ពេញចិត្តនឹងព្រះអង្គដែរ។ ទ្រង់ទុកឱ្យពួកគេប្រឈមនឹងពួកសត្រូវរបស់ទ្រង់។ ទ្រង់បានសាកល្បងពួកគេ តាមរយៈពួកសត្រូវរបស់ទ្រង់។ ខណៈដែលពួកគេឱ្យតម្លៃទ្រង់ជាងអ្វីៗទាំងអស់ សុខចិត្តលះបង់អាយុជីវិត ទ្រព្យសម្បត្តិ ដើម្បីទទួលបាននូវការសព្វព្រះទ័យ និងសេចក្ដីស្រលាញ់របស់ទ្រង់ រហូតដល់ពួកគេទទួលបាននូវសេចក្ដីស្រលាញ់ ការសព្វព្រះទ័យភាពជិតស្និទ្ធនឹងព្រះអង្គ។ បើគ្មានសកម្មភាពទាំងនេះទេ ពួកគេមិនទទួលបានគុណសម្បត្តិទាំងនេះជាដាច់ខាត។ ឋានៈនៃការទទួលសារពីព្រះអង្គ ភាពក្លាយជាណាពី និងការពលីជីវិត ដើម្បីទ្រង់គឺជាឋានៈដ៏ប្រសើរជាទីបំផុតនៅចំពោះព្រះអង្គ។ មនុស្សលោកមិនអាចទទួលបានបែបនេះទេ ទាល់តែអល់ឡោះជាម្ចាស់ទ្រង់សម្រេចឱ្យអាដាំនិងកូនចៅរបស់គាត់ចុះមកនៅលើភពផែនដីនេះ។

៤. ការពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតអាដាំនិងកូនចៅរបស់គាត់ពីធាតុផ្សំដែលងាយនឹងទទួលរងទាំងល្អនិងអាក្រក់។ និស្ស័យរបស់មនុស្សតែងមានកិលេសតណ្ហា ការអូសទាញ មានបញ្ញានិងចំណេះដឹង។ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមនុស្សឱ្យមាន

បញ្ញា និងតណ្ហា។ ទ្រង់បានបំពាក់ជាមួយនឹងបញ្ញានិងតណ្ហានេះ នូវកត្តាចាំបាច់ដោយឡែកៗពីគ្នា ដើម្បីបំពេញតាមសេចក្ដីប្រាថ្នារបស់ទ្រង់។ ម្យ៉ាងទៀត ដើម្បីបង្ហាញឱ្យមនុស្សស្គាល់ពីអានុភាពរបស់ទ្រង់ទាក់ទងនឹងគតិបណ្ឌិត អំណាច ក្ដីមេត្តាករុណា ការអាណិតស្រលាញ់ក្នុងការគ្រប់គ្រងនិងការត្រួតត្រារបស់ទ្រង់។ គតិបណ្ឌិតរបស់ទ្រង់តម្រូវឱ្យអាដាំ និងពូជអំបូររបស់គាត់ ចុះមកលើផែនដីនេះ ដើម្បីធ្វើឱ្យការសាកល្បងរបស់ទ្រង់ប្រព្រឹត្តទៅមុខ និងដើម្បីលាតត្រដាងពីស្នាដៃរបស់មនុស្សក្នុងការត្រៀមខ្លួនដើម្បីបំពេញកាតព្វកិច្ចឆ្លើយតបនឹងកត្តាចាំបាច់ទាំងនេះ។ លើសពីនេះ ការលើកតម្កើងឬការធ្វើឱ្យអាប់ឱនក៏អាស្រ័យលើកត្តាទាំងនេះផងដែរ។

៥. ការពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតសត្វលោកមក ដើម្បីគោរពសក្ការៈចំពោះទ្រង់ ហើយនេះជាគោលបំណងនៃការបង្កើតពួកគេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَا خَلَقْتُ ٱلْجِنَّ وَٱلْإِنسَ إِلَّا لِيَعْبُدُونِ ۝٥٦ ﴾ سورة الذاريات: ٥٦

មានន័យថា : *«យើងមិនបានបង្កើតជិន(បង់បត់)និងមនុស្សទេ លើកលែងតែដើម្បីឱ្យពួកគេគោរពសក្ការៈមកចំពោះយើង»។*

ជាទូទៅ ការគោរពសក្ការៈដ៏ពេញលក្ខណៈដែលគេទាមទារចង់បានពីសត្វលោកនោះពុំមែនកើតឡើងនៅឋានសួគ៌ដែលជាឋានដ៏អមតៈនោះទេ។ វាកើតឡើងនៅក្នុងលោកីយ៍ ដែលជាឋានសាកល្បងនេះឯង។ ឯចំណែកឋានសួគ៌ ឋានសោយសុខ ឋានបរមសុខ គឺគ្មានការសាកល្បងទេ ហើយក៏គ្មានការបង្គាប់ឱ្យអនុវត្តការគោរពសក្ការៈដែរ។

៦. ពិតណាស់ ជំនឿចំពោះប្រការអាថ៌កំបាំងគឺជាជំនឿដែលមានប្រយោជន៍។ បើជំនឿមើលឃើញ នរណាក៏មានជំនឿចំពោះថ្ងៃបរលោកដែរ។ បើសិនជាគេបង្កើតមកនៅក្នុងឋានសួគ៌តែម្តង ពួកគេមិនទទួលបាននូវឋានៈ នៃជំនឿចំពោះប្រការអាថ៌កំបាំងដែលលទ្ធផលចុងក្រោយនឹងទទួលបានសេចក្តីសុខ និងសេចក្តីថ្លៃថ្នូរ ដែលកើតចេញពីមូលហេតុនៃជំនឿចំពោះប្រការអាថ៌កំបាំង។ ដូច្នេះ ទើបអល់ឡោះជាម្ចាស់ទ្រង់បានបញ្ចុះពួកគេមកកាន់ឋានមួយ ដែលធ្វើឱ្យពួកគេមានជំនឿចំពោះប្រការអាថ៌កំបាំង។

៧. ការពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតអាដាំពីដីមួយក្តាប់ ដែលគេក្តាប់យកពីផែនដី។ ផែនដីមានធាតុល្អ និងអាក្រក់។ ធាតុពិបាកនិងធាតុងាយស្រួល។ អល់ឡោះជាម្ចាស់ទ្រង់ដឹងថា អំបូររបស់អាដាំ មានអ្នកដែលមិនសក្តិសមរស់នៅក្នុងឋានសួគ៌។ ទ្រង់ក៏បានបញ្ចុះគាត់មកកាន់ផែនដីនេះ ដើម្បីសម្រិតសម្រាំងមនុស្សល្អចេញពីមនុស្សអាក្រក់។ បន្ទាប់មក ទ្រង់បែងចែកពួកគេជាពីរឋានគឺ មនុស្សល្អបានរស់នៅក្បែរព្រះអង្គ និងមនុស្សអាក្រក់រស់នៅឋាននរកជាឋានសម្រាប់ជនអាក្រក់ទាំងឡាយ។

៨. ការពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់ប្រាថ្នាចង់ណែនាំឱ្យបម្រើរបស់ទ្រង់ដែលទ្រង់បានប្រទានពរជ័យចំពោះពួកគេនោះស្គាល់ពីសុក្រឹតភាពនិងតម្លៃនៃពរជ័យរបស់ទ្រង់ចំពោះពួកគេ ដើម្បីឱ្យពួកគេក្លាយជាអ្នកជាទីស្រលាញ់និងជាអ្នកដឹងគុណដ៏ឧត្តមបំផុតចំពោះទ្រង់។ ម៉្យាងទៀត ដើម្បីឱ្យពួកគេសោយសុខឱ្យអស់ពីចិត្ត នូវអ្វីដែល

ទ្រង់បានប្រទានដល់ពួកគេនៃបរមសុខនៅក្នុងឋានសួគ៌។ លើសពីនេះ ទ្រង់ប្រាថ្នាចង់បង្ហាញឱ្យពួកគេឃើញពីទង្វើរបស់ទ្រង់ចំពោះពួក សត្រូវរបស់ទ្រង់នូវអ្វីដែលទ្រង់បានត្រៀមទុកសម្រាប់ពួកគេ គឺទារុណកម្ម។ ទ្រង់បានបង្ហាញជាសក្ខីភាពឱ្យពួកគេឃើញការរៀបចំជាពិសេសសម្រាប់ពួកគេ នូវបរមសុខប្រភេទខ្ពស់បំផុតដើម្បីឱ្យពួកគេកាន់តែសប្បាយរីករាយ។ ភាពសប្បាយរីករាយដ៏ពេញលេញ និងការសប្បាយដ៏ឧត្តុង្គឧត្តមជាទីបំផុត។ ទាំងនេះជាការប្រទានពរជ័យ និងជាការស្រលាញ់ដ៏ពេញលក្ខណៈចំពោះពួកគេ។ ដូច្នេះ ចាំបាច់ត្រូវតែឱ្យពួកគេចុះមករស់នៅលើភពផែនដីនេះ ដើម្បីសាកល្បងនិងប្រឡងពួកគេ និងសម្រេចបាននូវសេចក្តីមេត្តា ករុណា កើតមានចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ និងទទួលរងនូវភាពអាម៉ាស់ចំពោះអ្នកណាដែលទ្រង់ប្រាថ្នាប្រកបទៅដោយគតិបណ្ឌិតនិងយុត្តិធម៌។ អល់ឡោះជាម្ចាស់មហាដឹងប្រកបដោយគតិបណ្ឌិត។



៩. ការពិតណាស់ អល់ឡោះជាម្ចាស់ប្រាថ្នាចង់ឱ្យអាដាំនិងកូនចៅរបស់គាត់ត្រលប់មកឋានសួគ៌វិញក្នុងសភាពដែលប្រសើរបំផុត។ ដូច្នេះ ទ្រង់ឱ្យពួកគេភ្លក្សរសជាតិទុក្ខលំបាកវេទនាក្នុងលោកីយ៍នេះ ដើម្បីឱ្យពួកគេដឹងពីតម្លៃនៃការចូលឋានសួគ៌ នៅថ្ងៃបរលោក ដើម្បីឱ្យពួកគេដឹងពីភាពប្រណីតនៃវត្ថុអ្វីមួយ ត្រូវយកទៅឆ្លុះនឹងអ្វីមួយទៀតដែលផ្ទុយពីវា។

បន្ទាប់ពីបានបកស្រាយពីដើមកំណើតមនុស្ស គប្បីបកស្រាយពីតម្រូវការរបស់គេចំពោះសាសនាដែលត្រឹមត្រូវ។

## តម្រូវការរបស់មនុស្សចំពោះសាសនា

តម្រូវការរបស់មនុស្សចំពោះសាសនា ធំធេងជាងតម្រូវការផ្សេងៗទៀត នៃកត្តាចាំបាច់នានាសម្រាប់ជីវិតរស់នៅ ពីព្រោះតែមនុស្សចាំបាច់ត្រូវដឹងពីអ្វីដែលទ្រង់សព្វព្រះទ័យនិងអ្វីដែលទ្រង់មិនសព្វព្រះទ័យ។ មនុស្សចាំបាច់ត្រូវមានចលនានិងសកម្មភាព ដើម្បីស្រូបទាញយកផលប្រយោជន៍ និងមានចលនា ដើម្បីរុញច្រានផលប៉ះពាល់ទាំងឡាយ។ ច្បាប់ឥស្លាមជាអ្នកបែងចែករវាងសកម្មភាពនិងទង្វើដែលនាំមកនូវផលប្រយោជន៍និងគ្រោះថ្នាក់។ នេះជាភាពយុត្តិធម៌របស់អល់ឡោះចំពោះសត្វលោករបស់ទ្រង់ ហើយពន្លឺរបស់ទ្រង់បំភ្លឺមនុស្សលោក។ មនុស្សលោកមិនអាចរស់នៅដោយគ្មានច្បាប់បែងចែករវាងអ្វីដែលពួកគេត្រូវធ្វើ និងអ្វីដែលពួកគេត្រូវបោះបង់ចោលនោះឡើយ។

បើសិនជាមនុស្សលោកមានបំណងប្រាថ្នា ចាំបាច់គេត្រូវស្គាល់អ្វីដែលខ្លួនប្រាថ្នាចង់បាន។ តើអ្វីដែលខ្លួនប្រាថ្នានោះ មានប្រយោជន៍ឬគ្រោះថ្នាក់? តើមានគុណសម្បត្តិ ឬគុណវិបត្តិ? នេះជាអ្វីដែលនិស្ស័យរបស់មនុស្សខ្លះស្គាល់ ហើយខ្លះទៀតស្គាល់ដោយគំនិតនៃបញ្ញារបស់គេ។ អ្នកខ្លះទៀតមិនអាចស្គាល់បានទេ លុះត្រាតែមានការពន្យល់ណែនាំ ការចង្អុលបង្ហាញដល់ពួកគេពីសំណាក់ពួកអ្នកនាំសារ។

បើទោះជាពួកអ្នកប្រកាន់លទ្ធិរូបធាតុនិយម ពួកទមិឡឥតសាសនា ខំប្រឹងឃោសនាផ្សព្វផ្សាយនិងខំលាបពណ៌។ បើទោះជាមានទស្ស

នៈ និងទ្រឹស្ដីផ្សេងៗមកផ្សព្វផ្សាយយ៉ាងណាក៏ដោយ ក៏សមាជិកម្នាក់ៗ និងសង្គមទាំងមូលមិនអាចខ្វះសាសនាដ៏ត្រឹមត្រូវនេះបានឡើយ។ លទ្ធិ ទស្សនៈ និងទ្រឹស្ដីទាំងនោះមិនបានបំពេញតម្រូវការខាងវិញ្ញាណ និងតម្រូវការខាងរាងកាយរបស់មនុស្សបានឡើយ។ ក៏ប៉ុន្តែរាល់ពេលដែលសមាជិកណាម្នាក់ជ្រួតជ្រាបក្នុងលទ្ធិមនោគមទាំងនោះហើយនោះ រូបគេមានជំនឿជាក់យ៉ាងច្បាស់ថា លទ្ធិទាំងនេះមិនអាចផ្ដល់សេចក្ដីសុខដល់រូបគេ ហើយមិនអាចរំលត់ការស្រេកឃ្លានរបស់គេបានឡើយ។ ម្យ៉ាងវិញទៀត ពួកគេគ្មានទីវិលត្រលប់ណាក្រៅពីសាសនាដ៏ត្រឹមត្រូវនោះឡើយ។ លោក អារិនសាត់ រ៉ូណាន បាននិយាយថា : « ការពិតណាស់ អ្វីគ្រប់យ៉ាងដែលយើងស្រលាញ់វាអាចបាត់បង់សេរីភាពនៃការប្រើបញ្ញា ចំណេះដឹង ហើយឧស្សាហកម្មទំនើបក៏អាចក្លាយជាមោឃៈបានដែរ។ ក៏ប៉ុន្តែការប្រកាន់សាសនាមិនងាយលុបចោលបានឡើយ។ មិនតែប៉ុណ្ណោះការប្រកាន់សាសនា ជាភស្តុតាងរស់បញ្ជាក់ពីភាពមោឃៈនៃលទ្ធិរូបធាតុនិយមដែលចង់ដាក់បញ្ចូលមនុស្សទៅក្នុងរង្វង់ដ៏តូចចង្អៀតគ្មានតម្លៃសម្រាប់ជីវិតរស់នៅលើភពដែនដីនេះ» ។

លោកមូហាំម៉ាត់ហ្វារីតវ៉ុចទីយ៏បាននិយាយថា : «គំនិតជំនឿសាសនាមិនអាចសាបសូន្យជាដាច់ខាត ពីព្រោះជាទំនោរផ្លូវចិត្តដ៏ខ្ពស់បំផុត ជាមនោសញ្ចេតនាដ៏ប្រពៃបំផុត។ មិនត្រឹមតែជាទំនោរដែលធ្វើឱ្យមនុស្សថ្លៃថ្នូរប៉ុណ្ណោះទេ តែជាទំនោរដែលនឹងមានការីកចម្រើនកាន់តែខ្លាំងឡើង។ និស្ស័យជំនឿសាសនា នឹងតោងជាប់ជាមួយនឹង

មនុស្សជាដរាបរៀងទៅ ដរាបណាគេនៅមានបញ្ញា គេគិតចេះបែងចែករវាងល្អនិងអាក្រក់ ហើយនិស្ស័យនេះនឹងរីកចម្រើនខ្លាំងតាមកម្រិតនៃការយល់ដឹងនិងការរីកចម្រើនផ្នែកចំណេះដឹងរបស់មនុស្ស»។

បើសិនជាមនុស្សឃ្លាតឆ្ងាយពីព្រះជាម្ចាស់របស់គេ គឺអាស្រ័យលើកម្រិតនៃការយល់ដឹងនិងវិសាលភាពនៃចំណេះដឹងរបស់គេ ទើបគេដឹងពីទំហំនៃភាពល្ងង់ខ្លៅរបស់មនុស្សចំពោះព្រះជាម្ចាស់ និងកាតព្វកិច្ចរបស់គេចំពោះទ្រង់។ ភាពល្ងង់ខ្លៅរបស់គេចំពោះខ្លួនឯង មិនដឹងថាអ្វីជាប្រយោជន៍និងអ្វីជាគ្រោះថ្នាក់ ហើយមិនដឹងថាអ្វីជាសំណាងល្អ អ្វីជាសំណាងអាក្រក់។ ម៉្យាងទៀត ភាពល្ងង់ខ្លៅរបស់គេទាក់ទងនឹងចំណេះដឹងបន្ទាប់បន្សំ និងពាក្យបច្ចេកទេសដែលទាក់ទងនឹងវិទ្យាសាស្ត្រផ្នែកគន្លងភព កាឡាក់ស៊ី តារាសាស្ត្រ និងបរមាណូ។ ដូច្នេះទើបអ្នកប្រាជ្ញវិទ្យាសាស្ត្រនឹងបន្ទាបខ្លួនមិនក្រអឺតក្រទមនិងមិនមានមោទនភាព ព្រមចុះចាញ់ ហើយគេជឿជាក់ថា នៅពីក្រោយវិទ្យាសាស្ត្រទាំងនោះ ពិតជាមានអ្នកចេះដឹងប្រកបដោយគតិបណ្ឌិត និងនៅពីក្រោយធម្មជាតិទាំងនោះ ច្បាស់ជាមានអ្នកបង្កើតដ៏មានអានុភាព។ សច្ចភាពនេះតម្រូវឱ្យអ្នកសិក្សាស្រាវជ្រាវ ដែលមិនលំអៀងត្រូវព្រមមានជំនឿចំពោះប្រការអាថ៌កំបាំង ព្រមឱនលំទោនចំពោះសាសនាដ៏ត្រឹមត្រូវ ហើយឆ្លើយតបនឹងការអំពាវនាវបែបឧបនិស្ស័យនេះ...។ បើសិនជាមនុស្សងាកចេញពីនេះ និស្ស័យសភាវៈគតិរបស់គេនឹងធ្លាក់ទៅក្នុងបាតរណ្ដៅនៃពពួកសត្វឃាតដែលអគតិ។

សូមសង្ខេបថា ជំនឿសាសនាដែលត្រឹមត្រូវគឺផ្អែកលើជំនឿចំពោះអល់ឡោះជាម្ចាស់តែមួយគត់ ហើយគោរពប្រណិប័តន៍ចំពោះទ្រង់ ស្របតាមច្បាប់ដែលជាធាតុចាំបាច់សម្រាប់ជីវិត ដើម្បីឱ្យបុគ្គលម្នាក់ៗសម្រេចជោគជ័យ តាមរយៈការគោរពសក្ការៈចំពោះអល់ឡោះជាព្រះជាម្ចាស់នៃសកលលោកទាំងមូល។ ម៉្យាងទៀត ដើម្បីទទួលបាននូវសុភមង្គល និងសេចក្តីសុខសុវត្ថិភាព ចាកផុតពីក្តីវិនាស ការបោកប្រាស់ និងផលអាក្រក់ទាំងក្នុងលោកីយ៍នេះ និងនៅបរលោក។ នេះជាកត្តាចាំបាច់ ដើម្បីបំពេញសក្តានុពលនៃទស្សនៈរបស់មនុស្ស។ ជំនឿសាសនានាំឱ្យបញ្ញារបស់មនុស្សស្កប់ស្កល់ទប់ទល់នឹងមហិច្ឆិតាលោភលន់របស់ខ្លួន ហើយបើគ្មានជំនឿសាសនាគ្មានអ្វីអាចបំពេញមហិច្ឆតារបស់មនុស្សឱ្យស្កប់ស្កល់បានឡើយ។

ជំនឿសាសនាជាធាតុមួយយ៉ាងសំខាន់ ដើម្បីជម្រះសម្អាតដួងព្រលឹងវិញ្ញាណ និងអប់រំ បណ្តុះនូវអំណាចមនោសញ្ចេតនា។ មនោសញ្ចេតនាថ្លៃថ្នូរ ជានិស្ស័យមួយដ៏សម្បូរបែបនៅក្នុងសាសនា ហើយវាជាប្រភពមួយដែលមិនចេះរីងស្ងួតអាចនាំមនុស្សទៅដល់គោលដៅនៃជីវិត។

ជំនឿសាសនាជាធាតុចាំបាច់ ដើម្បីបំពេញសក្តានុពលនៃសេចក្តីប្រាថ្នា ជួយផ្តល់កម្លាំងលើកទឹកចិត្តយ៉ាងសំខាន់ និងជាមធ្យោបាយទប់ស្កាត់ដ៏ធំបំផុតដើម្បីការពារជំងឺអស់សង្ឃឹម និងការបាក់ទឹកចិត្ត។

អាស្រ័យហេតុនេះ បើសិនជាមាននរណានិយាយថា មនុស្សជាសភាវៈដែលមានអារម្មណ៍តាមធម្មជាតិរបស់គេ។ ដូច្នេះ យើងគប្បីនិយាយថា មនុស្សក៏មានជំនឿសាសនាតាមនិស្ស័យពីកំណើតរបស់គេដែរ ពីព្រោះមនុស្សមានកម្លាំងពីរ កម្លាំងចំណេះដឹងបែបទស្សនវិជ្ជា និងកម្លាំងចំណេះដឹងបែបបំណងប្រាថ្នា ហើយសុភមង្គលដ៏ពេញលេញរបស់គេ ក៏អាស្រ័យលើកម្លាំងទាំងពីរ គឺចំណេះដឹង និងបំណងប្រាថ្នារបស់គេដ៏ពេញលេញផងដែរ។ កម្លាំងចំណេះដឹងមិនទាន់សម្រេចបានពេញលេញទេ លុះត្រាស្គាល់ប្រការមួយចំនួនដូចខាងក្រោម៖

១.ស្គាល់ព្រះជាម្ចាស់ជាអ្នកបង្កើត ជាអ្នកផ្តល់លាភសក្ការៈ ដែលទ្រង់បានបង្កើតមនុស្សពីគ្មាន ហើយទ្រង់បានប្រទានពរជ័យដ៏ច្រើនឥតគណនាដល់មនុស្សលោក។

២.ស្គាល់ព្រះនាមៗនិងព្រះលក្ខណៈសម្បត្តិរបស់អល់ឡោះ ស្គាល់ពីកាតព្វកិច្ចរបស់ខ្លួនចំពោះព្រះជាម្ចាស់ដ៏មហាពិសិដ្ឋ និងឥទ្ធិពលនៃព្រះនាមទាំងនេះចំពោះមនុស្សលោក។

៣. ស្គាល់ផ្លូវដែលអាចនាំរូបគេទៅដល់ព្រះជាម្ចាស់។

៤.ស្គាល់ពីឧបសគ្គនិងភាពអវិជ្ជមានទាំងឡាយដែលរារាំងមនុស្សមិនឱ្យស្គាល់ផ្លូវដែលនាំរូបគេទៅកាន់បរមសុខ។

៥.ស្គាល់ខ្លួនឯងឱ្យច្បាស់ ស្គាល់ពីតម្រូវការរបស់ខ្លួន អ្វីដែលនាំមកនូវផលប្រយោជន៍ និងអ្វីដែលនាំមកនូវគ្រោះថ្នាក់។ ម្យ៉ាងទៀត

ត្រូវស្គាល់ពីលក្ខណៈពិសេស និងលក្ខណៈខ្វះខាត ចំណុចខ្លាំង និងចំណុចខ្សោយរបស់ខ្លួនឯង។

ចំណេះដឹងទាំងប្រាំប្រការនេះ ធ្វើឱ្យកម្លាំងចំណេះដឹងរបស់មនុស្សពេញលេញ ហើយភាពពេញលេញនៃកម្លាំងចំណេះដឹងនិងបំណងប្រាថ្នាមិនអាចកើតឡើងជាដាច់ខាត លុះត្រាតែរក្សានូវសិទ្ធិរបស់ព្រះជាម្ចាស់ដែលមានចំពោះមនុស្សលោក។ ត្រូវគោរពប្រតិបត្តិសិទ្ធិទាំងនោះដោយចិត្តជ្រះថ្លា ស្មោះត្រង់ សេចក្តីភ្ញាក់រឭក និងត្រួតពិនិត្យឱ្យបានច្បាស់លាស់។ ម៉្យាងទៀតជាសាក្សីសម្រាប់រាល់អ្វីដែលទ្រង់បានប្រទានចំពោះគេ ហើយគ្មានផ្លូវដើម្បីបំពេញនូវកម្លាំងទាំងពីរនេះទេ លុះត្រាតែមានជំនួយគាំទ្រពីទ្រង់។ មនុស្សត្រូវបង្ខំចិត្តទទួលនូវការចង្អុលបង្ហាញរបស់ទ្រង់ទៅរកផ្លូវដែលត្រឹមត្រូវដែលទ្រង់ធ្លាប់បានចង្អុលបង្ហាញដល់បម្រើរបស់ទ្រង់។



បន្ទាប់ពីយើងស្គាល់ថា សាសនាដ៏ត្រឹមត្រូវជាជំនួយរបស់ព្រះជាម្ចាស់សម្រាប់កម្លាំងចិត្តផ្សេងៗគ្នា។ ម៉្យាងទៀត សាសនាគឺជាអាវក្រោះសម្រាប់ការពារសង្គមមនុស្ស ពីព្រោះជីវិតរស់នៅរបស់មនុស្សមិនអាចប្រព្រឹត្តទៅរលូនបានទេ លុះត្រាតែមានការសហការគ្នាសាមគ្គីគ្នារវាងសមាជិកសង្គម។ ការសាមគ្គីនេះពុំអាចប្រព្រឹត្តទៅជាដាច់ខាត លុះត្រាតែមានច្បាប់វិន័យរៀបចំទំនាក់ទំនងរបស់ពួកគេឱ្យបានត្រឹមត្រូវ កំណត់នូវកាតព្វកិច្ចរបស់ពួកគេ និងធានាសិទ្ធិសេរីភាពរបស់ពួកគេ។ ច្បាប់វិន័យទាំងនេះ ត្រូវការជាចាំបាច់នូវអ្នកគ្រប់គ្រងដ៏មានអំណាច ជាអភិបាល ការពារមនុស្សមិនឱ្យរំលោភបំពានគ្នា

ហើយជំរុញឱ្យមនុស្សពេញចិត្តក្នុងការការពារច្បាប់វិន័យនេះ។ ម៉្យាងទៀតជាអ្នកដែលធានានូវការគោរពកោតខ្លាចច្បាប់វិន័យនេះនៅក្នុងចិត្តរបស់មនុស្ស និងហាមមិនឱ្យរំលោភបំពានភាពពិសិដ្ឋរបស់ច្បាប់វិន័យនេះ។ តើអ្វីជាកម្លាំងអំណាចនោះ? ខ្ញុំនិយាយថា :«នៅលើភពផែនដីនេះ ពុំមានកម្លាំងណាដែលស្មើនឹងកម្លាំងជំនឿសាសនា ឬប្រហាក់ប្រហែលអាចធានាបាននូវការគោរពច្បាប់វិន័យ ធានាការបង្រួបបង្រួមសង្គម គោរពច្បាប់ និងសុខដុមនីយកម្មដែលជាមូលហេតុនៃសន្តិភាពនិងសេចក្តីសុខ»។

អាថ៌កំបាំងម៉្យាងទៀត គឺមនុស្សមានលក្ខណៈពិសេសជាងសភាវៈផ្សេងទៀត ដែលមានជីវិតដោយសារចលនា និងសកម្មភាពរបស់គេមានជម្រើសដែលគ្រប់គ្រងលើអ្វីមួយកើតឡើងពុំមែនជាឥន្ទ្រីយារម្មណ៍ស្តាប់ឮឬមើលឃើញនោះទេ។ ប៉ុន្តែវាគឺជាជំនឿដែលអប់រំផ្លូវចិត្ត និងជម្រះសម្អាតផ្លូវកាយ។ មនុស្សលោកត្រូវបានដឹកនាំជានិច្ច ដោយជំនឿត្រឹមត្រូវឬក៏ជំនឿខុស។ បើសិនជាជំនឿរបស់គេត្រឹមត្រូវអ្វីគ្រប់យ៉ាងនឹងល្អប្រសើរ។ តែបើសិនជាជំនឿរបស់គេខុសគឺអ្វីៗគ្រប់យ៉ាងនឹងត្រូវខូចអសារបង់។

លទ្ធិសាសនានិងជំនឿ គឺជាអំណាចពីរដែលឃ្លាំមើលសកម្មភាពផ្លូវកាយរបស់មនុស្ស។ គេសង្កេតទៅលើមនុស្សទូទៅ ឃើញថា ជំនឿរបស់គេមានពីរប្រភេទដូចខាងក្រោម៖

– ជំនឿចំពោះតម្លៃ សេចក្តីថ្លៃថ្នូររបស់មនុស្ស និងខ្លឹមសារទាំងឡាយដែលចិត្តមានជំនឿស៊ប់រមែងខ្លាចរអែងមិនហ៊ានប្រព្រឹត្ត

ផ្ទុយពីហេតុផលទាំងឡាយ។ ទោះបីជាការប្រព្រឹត្តនោះរួចផុតពីទោសនិងការផាកពិន័យជាទ្រព្យសម្បត្តិក៏ដោយ។

– ជំនឿចំពោះអល់ឡោះ គឺមានជំនឿថា ទ្រង់កំពុងឃ្លាំមើលអាថិកំបាំងក្នុងចិត្ត។ ទ្រង់ដឹងជ្រាបអំពីអាថិកំបាំង និងអ្វីដែលសម្ងាត់ជាងអាថិកំបាំង។ ច្បាប់សាសនាបានផ្ទេរសិទ្ធិអំណាចដល់អ្នកគ្រប់គ្រងច្បាប់នេះដោយមានការបង្គាប់បញ្ជានិងការហាមឃាត់អំពីទ្រង់ដោយផ្ទាល់។ អារម្មណ៏របស់អ្នកមានជំនឿពោរពេញដោយសេចក្តីខ្មាស និងស្រលាញ់ពេញចិត្តចំពោះទ្រង់ ឬកោតខ្លាចចំពោះទ្រង់ ឬស្រលាញ់ផងខ្លាចក្នុងពេលតែមួយ។ ជាការពិតណាស់ ប្រភេទនៃជំនឿនេះ គឺជាប្រភេទពីរដ៏មានអំណាចខ្លាំងបំផុតចំពោះផ្លូវចិត្តរបស់មនុស្ស។ វាពិតជាមានសក្តានុពលខ្លាំងក្លា ក្នុងការទប់ស្កាត់កម្លាំងតណ្ហា និងមនោសញ្ចេតនាច្របូកច្របល់។ ម៉្យាងទៀត កម្លាំងអំណាចនៃជំនឿទាំងពីរនេះ វាមានប្រសិទ្ធភាពខ្ពស់បំផុតក្នុងការគ្រប់គ្រងផ្លូវចិត្តជាទូទៅនិងដោយចំពោះ។

ហេតុដូច្នេះ សាសនាគឺជាការធានារ៉ាប់រងដ៏ប្រសើរបំផុត ក្នុងការប្រាស្រ័យទាក់ទងរបស់មនុស្សលោកពាក់ព័ន្ធនឹងច្បាប់ យុត្តិធម៌ និងសមធម៌ ហើយជាកត្តាចាំបាច់បំផុតសម្រាប់សង្គមរស់នៅ។ និយាយដោយការពិត ដំណោះស្រាយរបស់សាសនាចំពោះបញ្ហាសង្គមមនុស្សគឺជាដំណោះស្រាយបញ្ហាស្រេកឃ្លានខាងផ្លូវចិត្តជាងផ្លូវកាយ។

បើសិនជាសាសនាមានសារៈសំខាន់យ៉ាងនេះ ហើយតថភាពនៃសង្គមបច្ចុប្បន្ននៅក្នុងសកលលោកទាំងមូលមានសាស នានិងលទ្ធិជំនឿច្រើនរាប់មិនអស់។ ម្យ៉ាងទៀត ក្រុមនីមួយៗរីករាយជាមួយនឹងអ្វីដែលពួកគេប្រកាន់យក។ ដូច្នេះ តើសាសនាណាមួយត្រឹមត្រូវដែលបំពេញតាមតម្រូវការផ្លូវចិត្តរបស់មនុស្ស? តើសាសនាពិតនោះមានបទដ្ឋានឬគោលការណ៍យ៉ាងដូចម្ដេចខ្លះ?

## បទដ្ឋាននៃសាសនាពិត

ម្ចាស់នៃសាសនានីមួយៗតែងគិតថាសាសនារបស់ខ្លួនត្រឹមត្រូវ ហើយអ្នកកាន់សាសនានីមួយៗជឿថា សាសនារបស់ខ្លួនគឺជាសាសនាគំរូនិងជាមាគ៌ាដ៏ត្រឹមត្រូវ។ ពួកអ្នកកាន់សាសនាដែលត្រូវគេកែប្រែ ឬក្រុមអ្នកកាន់លទ្ធិសាសនាដែលមនុស្សបង្កើតឡើងដោយខ្លួនឯង នៅពេលគេសួរអំពីភស្តុតាងនិងអំណះអំណាងបញ្ជាក់ពីជំនឿរបស់ពួកគេ ពួកគេតែងអះអាងថា ពួកគេកាន់តាមជីដូនជីតារបស់ពួកគេ។ ពួកគេនិទានរឿងព្រេង និងដំណឹងផ្សេងៗ ដែលគ្មានប្រភពច្បាស់លាស់។ ម្យ៉ាងទៀត អត្ថបទទាំងនោះជៀសមិនផុតពីការក្លែងបន្លំ និងការកែប្រែ។ ពួកគេពឹងផ្អែកលើឯកសារកេរកាល គ្មានអ្នកនិពន្ធ។ តើច្បាប់ដើមគេសរសេរជាភាសាអ្វី? តើមានប្រភពចេញពីប្រទេសណា? អត្ថបទទាំងនោះគ្រាន់តែជាកម្រងអត្ថបទចម្រុះគេប្រមូលចងក្រងពីនេះពីនោះ។ បន្ទាប់មកពួកគេនាំគ្នាលើកតម្កើង ហើយបន្សល់ជាកេរមតិតពីជំនាន់មួយទៅជំនាន់មួយដោយគ្មានការត្រួតពិនិត្យជាលក្ខណៈវិទ្យា

សាស្រ្ត រកប្រភពអ្នកនិទាន និងពិនិត្យពីភាពត្រឹមត្រូវនៃអត្ថបទទាំងនោះ។

គម្ពីរឬសៀវភៅទាំងនោះជាអនាមិក ការនិទានតៗគ្នា គ្មានប្រភពពិតប្រាកដ មិនមានប្រសិទ្ធភាពជាភស្តុតាង ឬជាអំណះអំណាងសម្រាប់ប្រើប្រាស់ជាផ្លូវការ ក្នុងវិស័យសាសនានិងជំនឿ។ តើសាសនាដែលគ្មានសុក្រឹតភាព និងលទ្ធិជំនឿដែលមនុស្សបង្កើតឡើងនេះត្រឹមត្រូវ ឬក៏មិនត្រឹត្រូវ ?

គំនិតដែលយល់ថា សាសនាទាំងអស់សុទ្ធតែត្រឹមត្រូវទាំងអស់ គឺមិនអាចជាដាច់ខាត ពីព្រោះការពិតមានតែមួយមិនមានច្រើននោះទេ។ គំនិតម្យ៉ាងទៀតសាសនានិងលទ្ធិជំនឿដែលត្រូវគេកែប្រែ ឬដែលមនុស្សបង្កើតឡើង គឺជាសាសនាដែលមកអំពីព្រះជាម្ចាស់ និងជាសាសនាដែលត្រឹមត្រូវ។ បើសិនជាសាសនា និងលទ្ធិជំនឿមានច្រើន (តាមពិតមានតែមួយ) តើមួយណាពិតប្រាកដ? ដូច្នេះចាំបាច់ត្រូវតែមានបទដ្ឋាន ឬខ្នាតគំរូដើម្បីឱ្យស្គាល់ថា សាសនាមួយណាពិត ហើយសាសនាមួយណាមិនពិត។ បើយើងឃើញថា បទដ្ឋានទាំងនោះស្រប នឹងសាសនាណាមួយ យើងដឹងថាសាសនានោះជាសាសនាពិត។ បើសិនជាបទដ្ឋានទាំងនោះ ឬប្រការណាមួយមិនស្របនឹងសាសនាណាមួយ យើងដឹងថា សាសនានោះមិនមែនជាសាសនាពិត។

# បទដ្ឋានឬស្តង់ដាដែលយើងអាចបែងចែករវាងសាសនាពិតនិងសាសនាមិនពិត

ទី១. ជាសាសនាដែលមកអំពីអល់ឡោះ។ ទ្រង់បានបញ្ចុះមកតាមរយៈទេវតាមួយអង្គមកកាន់អ្នកនាំសារណាម្នាក់នៃពួកអ្នកនាំសាររបស់ទ្រង់ដើម្បីផ្សព្វផ្សាយដល់ពួកមនុស្សលោក។ សាសនាពិតគឺជាសាសនារបស់អល់ឡោះ។ អល់ឡោះជាម្ចាស់នឹងជុំនំជម្រះអំពើសត្វលោកទាំងឡាយនៅថ្ងៃបរលោកតាមច្បាប់សាសនា ដែលទ្រង់បានប្រទានចុះមកចំពោះពួកគេ។

ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّآ أَوۡحَيۡنَآ إِلَيۡكَ كَمَآ أَوۡحَيۡنَآ إِلَىٰ نُوحٖ وَٱلنَّبِيِّـۧنَ مِنۢ بَعۡدِهِۦۚ وَأَوۡحَيۡنَآ إِلَىٰٓ إِبۡرَٰهِيمَ وَإِسۡمَٰعِيلَ وَإِسۡحَٰقَ وَيَعۡقُوبَ وَٱلۡأَسۡبَاطِ وَعِيسَىٰ وَأَيُّوبَ وَيُونُسَ وَهَٰرُونَ وَسُلَيۡمَٰنَۚ وَءَاتَيۡنَا دَاوُۥدَ زَبُورٗا ﴿١٦٣﴾ ﴾ سورة النساء: ١٦٣

មានន័យថា : «*ការពិតណាស់ យើងបានត្រាស់បន្ទូលទៅកាន់ឯងដូចជាយើងបានត្រាស់បន្ទូលទៅកាន់ណួស៍ និងពួកណាពីជាបន្តបន្ទាប់។ យើងបានត្រាស់បន្ទូលទៅកាន់អ៊ីព្រហ៊ីម អ៊ីស្មាឯល អ៊ីស្ហាក យ៉ាក់កូប និងពួកណាពីដែលមកពីកុលសម្ព័ន្ធទាំងដប់ពីរនៃពួកអ៊ីស្រាឯល នៃកូនចៅរបស់យ៉ាក់កូប ព្រមទាំងបានត្រាស់បន្ទូលទៅកាន់ អ៊ីសា អៃយូប ហារូន ស៊ូឡៃម៉ាន។ យើងបានប្រទានគម្ពីរហ្សាពួរដល់ដាវូត*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَمَآ أَرۡسَلۡنَا مِن قَبۡلِكَ مِن رَّسُولٍ إِلَّا نُوحِيٓ إِلَيۡهِ أَنَّهُۥ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱعۡبُدُونِ ﴿٢٥﴾ ﴾
سورة الأنبياء: ٢٥

មានន័យថា : *«យើងពុំបានបញ្ជូនអ្នកនាំសារណាម្នាក់មុនឯងទេ លើកលែងតែយើងបានត្រាស់បន្ទូលទៅកាន់គេថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈឡើយ លើកលែងតែយើង(ព្រះជាម្ចាស់)។ ចូរពួកអ្នកគោរពសក្ការៈមកចំពោះយើងចុះ»។*

ផ្អែកលើសេចក្ដីអធិប្បាយខាងលើ ឱ្យតែសាសនាណាមួយដែលបុគ្គលណាម្នាក់នាំមក ហើយអះអាងថា ខ្លួនជាអ្នកបង្កើតឡើងក្រៅពីអល់ឡោះជាម្ចាស់នោះ គឺជាសាសនាមិនពិត។

ទី២. ជាសាសនាដែលអំពាវនាវទៅរកការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់តែមួយគត់។ហាមការគោរពពហុទេព និងមធ្យោបាយទាំងឡាយដែលនាំទៅរកពហុទេព ពីព្រោះការអំពាវនាវទៅរកជំនឿតាវហេត (ជំនឿឯកទេវតា) គឺជាមូលដ្ឋានគ្រឹះនៃការអំពាវនាវរបស់ពួកណាពី និងពួកអ្នកនាំសារ។ គ្រប់ណាពីទាំងអស់តែងមានប្រសាសន៍ទៅកាន់សាសន៍របស់ពួកគាត់ថា :

﴿ اَعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓ ﴾ سورة الأعراف: ٥٩

មានន័យថា : *«ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ។ សម្រាប់ពួកអ្នកគ្មានព្រះផ្សេងក្រៅពីទ្រង់ឡើយ»។*

ផ្អែកលើបទដ្ឋាននេះ សាសនាណាក៏ដោយដែលមានរួមបញ្ចូលការគោរពពហុទេព និងគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់ដោយមានអ្នកដទៃរួមជាមួយទ្រង់ ដូចជាណាពី ពួកទេវតា និងអ្នកមានកុសលធម៌នោះ គឺជាសាសនាដែលមិនពិត បើទោះជាអ្នកកាន់

សាសនានោះអះអាងថា ជាសាសនារបស់ណាពីណាម្នាក់ក្នុងចំណោមពួកណាពីទាំងឡាយក៏ដោយ។

ទី៣. ជាសាសនាដែលឯកភាពជាមួយនឹងមូលដ្ឋានគ្រឹះដែលពួកអ្នកនាំសារទាំងឡាយបានអំពាវនាវទៅរកការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់តែមួយគត់។ អំពាវនាវទៅរកផ្លូវរបស់ទ្រង់ និងបម្រាមចំពោះការគោរពពហុទេព អំពើអកតញ្ញូចំពោះឪពុកម្តាយ ការសម្លាប់ជីវិតដោយខុសច្បាប់និងដាក់បម្រាមចំពោះអំពើអបាយមុខដោយបើកចំហនិងលាក់បាំង។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿وَمَآ أَرۡسَلۡنَا مِن قَبۡلِكَ مِن رَّسُولٍ إِلَّا نُوحِيٓ إِلَيۡهِ أَنَّهُۥ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱعۡبُدُونِ ٢٥﴾

سورة الأنبياء: ٢٥

មានន័យថា : *«យើងពុំបានបញ្ជូនអ្នកនាំសារណាម្នាក់មុនឯង លើកលែងតែយើងបានត្រាស់បន្ទូលទៅកាន់គេថា គ្មានព្រះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈលើកលែងតែយើង(ព្រះជាម្ចាស់)។ ចូរពួកអ្នកគោរពសក្ការៈមកចំពោះយើងចុះ»*។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿قُلۡ تَعَالَوۡاْ أَتۡلُ مَا حَرَّمَ رَبُّكُمۡ عَلَيۡكُمۡۖ أَلَّا تُشۡرِكُواْ بِهِۦ شَيۡـٔٗاۖ وَبِٱلۡوَٰلِدَيۡنِ إِحۡسَٰنٗاۖ وَلَا تَقۡتُلُوٓاْ أَوۡلَٰدَكُم مِّنۡ إِمۡلَٰقٖ نَّحۡنُ نَرۡزُقُكُمۡ وَإِيَّاهُمۡۖ وَلَا تَقۡرَبُواْ ٱلۡفَوَٰحِشَ مَا ظَهَرَ مِنۡهَا وَمَا بَطَنَۖ وَلَا تَقۡتُلُواْ ٱلنَّفۡسَ ٱلَّتِي حَرَّمَ ٱللَّهُ إِلَّا بِٱلۡحَقِّۚ ذَٰلِكُمۡ وَصَّىٰكُم بِهِۦ لَعَلَّكُمۡ تَعۡقِلُونَ ١٥١﴾

سورة الأنعام: ١٥١

មានន័យថា : *«នែអ្នកនាំសារ! ចូរឯងមានប្រសាសន៍ថា ចូរនាំគ្នាមកទីនេះ ខ្ញុំនឹងសូត្រឱ្យពួកអ្នកស្តាប់នូវអ្វីដែលព្រះជាម្ចាស់របស់ពួកអ្នកបានហាមប្រាមទៅលើពួកអ្នក គឺពួកអ្នកមិនត្រូវគោរពពហុទេពណាមួយរួមជាមួយនឹងទ្រង់។ ត្រូវកតញ្ញូចំពោះឪពុកម្តាយ ហើយចូរកុំសម្លាប់កូនចៅរបស់ពួកអ្នកព្រោះតែភាពក្រីក្រ។ យើងជាអ្នកផ្តល់ជីវភាពរស់នៅ និងលាភសក្ការៈដល់ពួកអ្នកនិងពួកគេ។ ចូរកុំទៅបៀតអំពើអបាយមុខ ទាំងបើកចំហនិងលាក់បាំង។ ចូរកុំសម្លាប់ជីវិតដែលទ្រង់បានដាក់ច្បាប់ហាម លើកលែងតែស្របច្បាប់។ ទាំងនេះ គឺជាអ្វីដែលទ្រង់បានដាក់ច្បាប់បង្គាប់ប្រើចំពោះពួកអ្នក។ សង្ឃឹមថា ពួកអ្នកយកទៅពិចារណា»*។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ وَسْـَٔلْ مَنْ أَرْسَلْنَا مِن قَبْلِكَ مِن رُّسُلِنَآ أَجَعَلْنَا مِن دُونِ ٱلرَّحْمَـٰنِ ءَالِهَةً يُعْبَدُونَ ﴿٤٥﴾ ﴾

سورة الزخرف: ٤٥

មានន័យថា : *«មូហាំម៉ាត់! ចូរសួរពួកអ្នកដែលដើរតាមពួកអ្នកនាំសារជំនាន់មុនៗថា តើយើងពិតជាបង្កើតព្រះផ្សេងក្រៅពីអល់ឡោះដ៏មហាមេត្តា ឱ្យពួកគេគោរពសក្ការៈមែនទេ? »*។

ទី៤. បទដ្ឋានទាំងនោះមិនត្រូវខ្វែងគ្នា ហើយក៏មិនត្រូវផ្ទុយគ្នា មិនត្រូវបង្គាប់កិច្ចការអ្វីមួយដែលផ្ទុយនឹងកិច្ចការមួយផ្សេងទៀត។ ម៉្យាងទៀត មិនត្រូវហាមអ្វីមួយ និងអនុញ្ញាតអ្វីមួយដែលស្រដៀងគ្នា និងអ្វីដែលគេហាមដោយគ្មានមូលហេតុ។ លើសពីនេះមិនត្រូវហាម

ឬអនុញ្ញាត អ្វីមួយចំពោះក្រុមណាមួយ ហើយហាមចំពោះក្រុមមួយផ្សេងទៀតនោះឡើយ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَفَلَا يَتَدَبَّرُونَ ٱلْقُرْءَانَ ۚ وَلَوْ كَانَ مِنْ عِندِ غَيْرِ ٱللَّهِ لَوَجَدُوا۟ فِيهِ ٱخْتِلَٰفًا كَثِيرًا ﴿٨٢﴾ ﴾

سورة النساء: ٨٢

មានន័យថា : *«តើពួកគេមិនពិនិត្យសង្កេតមើលក្នុងគម្ពីរអាល់គួរអានទេឬ? បើសិនជាគម្ពីរនេះមកអំពីអ្នកផ្សេងក្រៅពីអល់ឡោះ ពួកគេនឹងប្រទះឃើញមានភាពផ្ទុយគ្នាយ៉ាងច្រើនសន្ធឹកសន្ធាប់ក្នុងគម្ពីរនេះ»។*

ទី៥. សាសនានេះមានថែងនូវមាត្រាទាំងឡាយដែលរក្សាសិទ្ធិរបស់មនុស្សលោកទាក់ទងនឹងសាសនា កិត្តិយស ទ្រព្យសម្បត្តិ អាយុជីវិត និងក្រុមគ្រួសាររបស់ពួកគេ តាមអ្វីដែលគេបានបញ្ញត្តិច្បាប់ក្នុងបទបញ្ជា ការហាមឃាត់ ការទប់ស្កាត់ និងក្រមសីលធម៌ដែលរក្សានូវកត្តាចាំបាច់ទាំងប្រាំយ៉ាងខាងលើ។

ទី៦. ជាសាសនាដែលមានក្តីមេត្តាចំពោះសត្វលោកទាំងមូលការពារពីការជិះជាន់ដោយអយុត្តិធម៌ទៅលើពួកគេ និងការប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះគ្នាទៅវិញទៅមក ទោះជាការប្រព្រឹត្តអំពើអយុត្តិធម៌នោះ ដោយការបៀតបៀនលើសិទ្ធិសេរីភាព ឬបង្កភាពវិនាសហិនហោចដល់ផលប្រយោជន៍ឬដោយអ្នកមានអំណាចបោកបញ្ឆោតអ្នកតូចតាច។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីការមេត្តាករុណាដែលមាននៅក្នុងគម្ពីរតាវរ៉ត(គម្ពីរសញ្ញាណចាស់) ដែលទ្រង់បានប្រទានដល់ណាពីមូសា។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَمَّا سَكَتَ عَن مُّوسَى ٱلۡغَضَبُ أَخَذَ ٱلۡأَلۡوَاحَۖ وَفِي نُسۡخَتِهَا هُدٗى وَرَحۡمَةٞ لِّلَّذِينَ هُمۡ لِرَبِّهِمۡ يَرۡهَبُونَ ١٥٤ ﴾ سورة الأعراف: ١٥٤

មានន័យថា : «*នៅពេលដែលមូសាបាត់ខឹង គេបានទៅរើសយកគម្ពីរដែលគេបានបោះចោលនោះមកវិញ។ ក្នុងគម្ពីរនេះមានបកស្រាយអំពីសច្ចភាព និងជាក្តីមេត្តាសម្រាប់ពួកអ្នកដែលកោតខ្លាចចំពោះអល់ឡោះ*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីការបញ្ជូនណាពីអ៊ីសា (យេស៊ូ)ថា :

﴿ وَلِنَجۡعَلَهُۥٓ ءَايَةٗ لِّلنَّاسِ وَرَحۡمَةٗ ﴾ سورة مريم: ٢١

មានន័យថា : «*យើងបង្កើតគេជាសញ្ញាភស្តុតាងបញ្ជាក់ពីអានុភាពរបស់អល់ឡោះ ចំពោះមនុស្សលោកនិងជាក្តីមេត្តាករុណា*»។

អល់ឡោះជាម្ចាស់ដ៏មហារុងរឿងបានបន្ទូលអំពីណាពីសឡេះថា :

﴿ قَالَ يَٰقَوۡمِ أَرَءَيۡتُمۡ إِن كُنتُ عَلَىٰ بَيِّنَةٖ مِّن رَّبِّي وَءَاتَىٰنِي مِنۡهُ رَحۡمَةٗ ﴾ سورة هود: ٦٣

មានន័យថា : «*ណាពីសឡេះបានមានប្រសាសន៍ទៅកាន់សាសន៍របស់គេថា នៃសាសន៍របស់ខ្ញុំ! តើពួកអ្នកយល់យ៉ាងម៉េចដែរ បើសិនជាខ្ញុំត្រូវបានបញ្ជូនមកអំពីព្រះជាម្ចាស់របស់ខ្ញុំ មានភស្តុតាងច្បាស់លាស់ហើយទ្រង់បានប្រទានក្តីមេត្តាករុណាដល់ខ្ញុំ?*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَنُنَزِّلُ مِنَ ٱلۡقُرۡءَانِ مَا هُوَ شِفَآءٞ وَرَحۡمَةٞ لِّلۡمُؤۡمِنِينَ ﴾ سورة الإسراء: ٨٢

មានន័យថា : «*យើងបានប្រទានចុះមកក្នុងគម្ពីរអាល់គួរអាននេះ ជាថ្នាំព្យាបាលជំងឺផ្លូវចិត្តនិងជាក្តីមេត្តាសម្រាប់ពួកអ្នកមានជំនឿទាំងឡាយ*»។

ទី៧.ជាសាសនាប្រកបដោយការចង្អុលបង្ហាញទៅរកច្បាប់បញ្ញត្តិរបស់អល់ឡោះ និងចង្អុលបង្ហាញមនុស្សទៅរកការគោរពតាមសេចក្តីប្រាថ្នារបស់អល់ឡោះ។ ម៉្យាងទៀតការបកស្រាយប្រាប់ពួកគេថា តើពួកគេមកពីណា ហើយវាសនាពួកគេនឹងវិលត្រលប់ទៅទីណា? អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីគម្ពីរតាវ៉រ៉តថា :

﴿ إِنَّآ أَنزَلۡنَا ٱلتَّوۡرَىٰةَ فِيهَا هُدٗى وَنُورٞ ﴾ سورة المائدة: ٤٤

មានន័យថា : «*ពិតណាស់ យើងបានប្រទានគម្ពីរតាវ៉រ៉តចុះមកក្នុងនោះមានការចង្អុលបង្ហាញនិងការស្រាយបំភ្លឺអំពីក្បួនច្បាប់ទាំងឡាយ*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីគម្ពីរអិញ្ជីល(គម្ពីរសញ្ញាណថ្មី)ថា :

﴿ وَءَاتَيۡنَٰهُ ٱلۡإِنجِيلَ فِيهِ هُدٗى وَنُورٞ ﴾ سورة المائدة: ٤٦

មានន័យថា : «*យើងបានប្រទានដល់យេស៊ូនូវគម្ពីរអិញ្ជីល ក្នុងនោះមានការចង្អុលបង្ហាញទៅរកសច្ចភាព និងស្រាយបំភ្លឺអំពីអ្វីដែលមនុស្សមិនដឹងក្នុងច្បាប់របស់អល់ឡោះ*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីគម្ពីរអាល់គួរអានថា :

﴿ هُوَ ٱلَّذِيٓ أَرۡسَلَ رَسُولَهُۥ بِٱلۡهُدَىٰ وَدِينِ ٱلۡحَقِّ ﴾ سورة التوبة: ٣٣

មានន័យថា : «*អល់ឡោះជាម្ចាស់បានបញ្ជូនអ្នកនាំសាររបស់ទ្រង់ឈ្មោះមូហាំម៉ាត់ដោយមានគម្ពីរអាល់គួរអាននិងសាសនាឥស្លាម*»។

សាសនាពិតគឺជាសាសនាដែលមានការចង្អុលបង្ហាញទៅរកច្បាប់របស់អល់ឡោះជាម្ចាស់ ហើយផ្តល់សន្តិភាពនិងសេចក្តីស្ងប់ដល់ផ្លូវចិត្ត។ សាសនានេះអាចជម្រះសម្អាតផ្លូវចិត្ត ពីរាល់ការល្បួងរំខាន

របស់បិសាច និងឆ្លើយតបរាល់ចម្ងល់ទាំងឡាយ ហើយបកស្រាយនូវរាល់បញ្ហាទាំងឡាយ។

ទី៨. ជាសាសនាដែលអំពាវនាវទៅរកសីលធម៌ល្អ និងការប្រតិបត្តិសេចក្តីល្អ ដូចជាភាពស្មោះត្រង់ យុត្តិធម៌ ទំនុកចិត្ត ភាពអៀនខ្មាស ភាពស្អាតបរិសុទ្ធ និងសេចក្តីថ្លៃថ្នូរ។ ម៉្យាងទៀត ជាសាសនាដែលហាមឃាត់ពីអំពើអាក្រក់ទាំងឡាយ ដូចជា អកតញ្ញូចំពោះឪពុកម្តាយ ការសម្លាប់ជីវិត និងការហាមប្រាមពីអំពើអបាយមុខទាំងឡាយ ការកុហកបោកប្រាស់ ការជិះជាន់ដោយអយុត្តិធម៌ អំពើពេស្យា ការរិះកំណាញ់ និងអំពើបាបផ្សេងៗ។

ទី៩. ត្រូវផ្តល់សុភមង្គលចំពោះអ្នកដែលមានជំនឿលើសាសនានេះ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ طه ۝١ مَآ أَنزَلۡنَا عَلَيۡكَ ٱلۡقُرۡءَانَ لِتَشۡقَىٰٓ ۝٢ ﴾ سورة طه: ١ - ٢

មានន័យថា : *«តហា.... យើងពុំបានបញ្ចុះគម្ពីរអាល់គួរអាននេះមកចំពោះអ្នកក្នុងបំណងធ្វើឱ្យអ្នកអភ័ព្វនោះទេ»*។

សាសនានោះត្រូវតែស្របជាមួយនិស្ស័យពីធម្មជាតិ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ فِطۡرَتَ ٱللَّهِ ٱلَّتِي فَطَرَ ٱلنَّاسَ عَلَيۡهَا ﴾ سورة الروم: ٣٠

មានន័យថា : *«និស្ស័យពីធម្មជាតិដែលអល់ឡោះជាម្ចាស់បានបង្កើតមនុស្ស ឱ្យមាននិស្ស័យនេះតាំងពីកំណើត»*។

វាជាសាសនាដែលស្របជាមួយបញ្ញាញាណដ៏ត្រឹមត្រូវ ពីព្រោះសាសនាដ៏ត្រឹមត្រូវគឺជាច្បាប់របស់អល់ឡោះ។ បញ្ញាដែលត្រឹមត្រូវ គឺ

ជាការបង្កើតរបស់អល់ឡោះ។ ច្បាប់របស់អល់ឡោះមិនអាចផ្ទុយនឹងការបង្កើតរបស់ទ្រង់ជាដាច់ខាត។

ទី១០. សាសនានេះបានបង្ហាញមនុស្សទៅរកសច្ចភាព ហើយដាស់តឿនមនុស្សឱ្យប្រុងប្រយ័ត្នអំពីអសច្ចភាព។ ណែនាំមនុស្សទៅរកផ្លូវត្រូវនិងបញ្ចៀសពួកជិន(បង់បត់) ខណៈដែលពួកគេឮគម្ពីរអាល់គួរអាន។ ពួកគេបាននិយាយគ្នាថា :

﴿ يَٰقَوۡمَنَآ إِنَّا سَمِعۡنَا كِتَٰبًا أُنزِلَ مِنۢ بَعۡدِ مُوسَىٰ مُصَدِّقٗا لِّمَا بَيۡنَ يَدَيۡهِ يَهۡدِيٓ إِلَى ٱلۡحَقِّ وَإِلَىٰ طَرِيقٖ مُّسۡتَقِيمٖ ﴿٣٠﴾ ﴾ سورة الأحقاف: ٣٠

មានន័យថា : «*នែពួកយើង! ពិតណាស់យើងបានស្តាប់ឮគម្ពីរមួយច្បាប់ដែលគេបញ្ចុះមកបន្ទាប់ពីមូសា ជាគម្ពីរដែលបញ្ជាក់ពីសច្ចភាពដែលមាននៅក្នុងគម្ពីរមុនៗ។ វាចង្អុលបង្ហាញទៅរកសច្ចភាពនិងផ្លូវត្រូវ*»។

សាសនានេះមិនបានអំពាវនាវមនុស្សទៅរកសេចក្តីអភ័ព្វ និងសំណាងអាក្រក់នោះទេ។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ طه ﴿١﴾ مَآ أَنزَلۡنَا عَلَيۡكَ ٱلۡقُرۡءَانَ لِتَشۡقَىٰٓ ﴿٢﴾ ﴾ سورة طه: ١ - ٢

មានន័យថា : «*តហា..យើងពុំបានបញ្ចុះគម្ពីរអាល់គួរអានមកចំពោះអ្នកក្នុងបំណងឱ្យអ្នកអភ័ព្វនោះទេ*»។

ម្យ៉ាងទៀត សាសនានេះមិនបង្គាប់ប្រើមនុស្សឱ្យប្រព្រឹត្តអ្វីមួយដែលនាំឱ្យគេវិនាសហិនហោចនោះទេ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَلَا تَقۡتُلُوٓاْ أَنفُسَكُمۡۚ إِنَّ ٱللَّهَ كَانَ بِكُمۡ رَحِيمٗا ﴿٢٩﴾ ﴾ سورة النساء: ٢٩

មានន័យថា : *«ចូរពួកអ្នកកុំសម្លាប់គ្នាទៅវិញទៅមក។ ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់មហាអាណិតស្រលាញ់ចំពោះពួកអ្នក»។*

សាសនានេះមិនបែងចែកពួកអ្នកដើរតាមដោយសារតែមូលហេតុជាតិសាសន៍ វណ្ណៈនិងកុលសម្ព័ន្ធ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ يَٰٓأَيُّهَا ٱلنَّاسُ إِنَّا خَلَقۡنَٰكُم مِّن ذَكَرٖ وَأُنثَىٰ وَجَعَلۡنَٰكُمۡ شُعُوبٗا وَقَبَآئِلَ لِتَعَارَفُوٓاْۚ إِنَّ أَكۡرَمَكُمۡ عِندَ ٱللَّهِ أَتۡقَىٰكُمۡۚ إِنَّ ٱللَّهَ عَلِيمٌ خَبِيرٞ ١٣ ﴾ سورة الحجرات: ١٣

មានន័យថា : *«ឱមនុស្សលោកទាំងឡាយ! ពិតណាស់ យើងបានបង្កើតពួកអ្នកពីបុរសម្នាក់(អាដាំ)និងស្ត្រីម្នាក់(ហាវ៉ា) ហើយយើងបានបង្កើតពួកអ្នកជាប្រជាជាតិ និងកុលសម្ព័ន្ធជាច្រើនដើម្បីឱ្យពួកអ្នកស្គាល់គ្នា។ ប្រាកដណាស់ អ្នកដែលប្រសើរជាងគេចំពោះអល់ឡោះក្នុងចំណោមពួកអ្នក គឺអ្នកដែលកោតខ្លាចចំពោះទ្រង់ខ្លាំងជាងគេ។ ពិតណាស់ អល់ឡោះទ្រង់មហាដឹងដ៏ចំណាន»។*



ខ្នាតគំរូជាផ្លូវការដែលបែងចែកតម្លៃរវាងមនុស្សលោកក្នុងសាសនានោះ គឺការកោតខ្លាចចំពោះអល់ឡោះ។

ក្រោយពេលបង្ហាញបទដ្ឋានដែលបែងចែករវាងសាសនាពិតនិងសាសនាមិនពិតចំពោះអល់ឡោះគឺសំអាងលើមាត្រាទាំងឡាយដែលមានចែងក្នុងគម្ពីរអាល់គួរអាន ជាភស្តុតាងបញ្ជាក់ពីបទដ្ឋានទូទៅសម្រាប់ពួកអ្នកនាំសារដ៏ស្មោះត្រង់ទាំងឡាយ ដែលអល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនមក។ ម៉្យាងទៀត ឆ្លៀតឱកាសនេះក៏សូមលើកយកមកបង្ហាញផងដែរអំពីប្រភេទនៃសាសនាផ្សេងៗ។

## ប្រភេទនៃសាសនាផ្សេងៗ

គេបែងចែកមនុស្សទៅជាពីរផ្នែកតាមសាសនារបស់ពួកគេ។ មួយផ្នែកមានគម្ពីរដែលគេបញ្ចុះមកអំពីអល់ឡោះជាម្ចាស់ដូចជា ពួកជ្វីហ្វ ពួកគ្រីស្ទាន និងពួកមូស្លីម។ ចំពោះពួកជ្វីហ្វនិងពួកគ្រីស្ទាន ដោយមូលហេតុពួកគេមិនប្រតិបត្តិតាមមាត្រាច្បាប់ដែលមានចែងក្នុងគម្ពីរ ពួកគេបានយកមនុស្សដូចគ្នា ធ្វើជាព្រះជាម្ចាស់ក្រៅពីអល់ឡោះ ឆ្លងកាត់ច្រើនសម័យកាល ទើបគម្ពីរច្បាប់ដើមរបស់ពួកគេដែលអល់ឡោះជាម្ចាស់បានបញ្ចុះមកឱ្យណាពីទាំងឡាយបានបាត់បង់។ ពួកបព្វជិតសាសនានាំគ្នាចងក្រងដោយខ្លួនឯង ហើយអះអាងថាជាគម្ពីរមកអំពីអល់ឡោះ។ តាមពិតវាមិនមែនមកពីអល់ឡោះជាម្ចាស់នោះទេ។ គម្ពីរទាំងនោះគឺជាការលួចចម្លងពាក្យសម្ដី របស់ពួកមនុស្សខិលខូច និងជាការកែប្រែរបស់ពួកអ្នកជ្រុលនិយមតែប៉ុណ្ណោះ។

ចំណែកគម្ពីររបស់ពួកមូស្លីមវិញ (គម្ពីរអាល់គួរអានដ៏ឧត្តម) គឺជាគម្ពីរចុងក្រោយបង្អស់របស់ព្រះ។ វាជាគម្ពីរដែលមានទំនុកចិត្តជាងគេ ទទួលបានការធានា ការអភិរក្សអំពីអល់ឡោះជាម្ចាស់។ ទ្រង់មិនដាក់បន្ទុកការអភិរក្សរក្សាគម្ពីរនេះ ទៅលើមនុស្សលោកនោះទេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّا نَحۡنُ نَزَّلۡنَا ٱلذِّكۡرَ وَإِنَّا لَهُۥ لَحَٰفِظُونَ ٩ ﴾ سورة الحجر: ٩

មានន័យថា : *«ពិតណាស់ យើងបានប្រទានគម្ពីរអាល់គួរអានចុះមក ហើយយើងជាអ្នកថែរក្សាគម្ពីរនេះ»។*

គម្ពីរនេះត្រូវបានរក្សាទុកនៅក្នុងដើមទ្រូង និងសរសេរចារទុកក្នុងគម្ពីរ ពីព្រោះជាគម្ពីរចុងក្រោយ ដែលអល់ឡោះទ្រង់ធានាការចង្អុលបង្ហាញដល់មនុស្សជាតិទាំងឡាយ។ ទ្រង់បង្កើតគម្ពីរនេះជាភស្តុតាង បង្ហាញជូនពួកគេរហូតដល់ថ្ងៃបរលោក។ ទ្រង់បានចារក្នុងព្រះលិខិតរួចហើយថាគម្ពីរនេះនៅគង់វង្សស្ថិតស្ថេរជារៀងរហូត។ ទ្រង់បានបម្រុងទុកជាស្រេចសម្រាប់រាល់សម័យកាលនីមួយៗនូវពួកអ្នកដែលនឹងអនុវត្តតាមមាត្រាច្បាប់ ដែលមានចែងក្នុងគម្ពីរនេះ។ ពួកគេនាំគ្នាប្រតិបត្តិតាមច្បាប់បញ្ញត្តិ និងមានជំនឿចំពោះគម្ពីរនេះ។ ម៉្យាងទៀត យើងខ្ញុំនឹងធ្វើការបកស្រាយពិស្តារពីគម្ពីរដ៏ឧត្តមនេះក្នុងជំពូកក្រោយទៀត។

មួយផ្នែកទៀត ក្រុមមនុស្សដែលគ្មានគម្ពីរបញ្ចុះមកអំពីអល់ឡោះជាម្ចាស់ ថ្វីបើពួកគេមានគម្ពីរជាកេរមតិកបន្សល់ពីដូនតារបស់ពួកគេ ដូចជា សាសនាព្រហ្មញ្ញ សាសនាព្រះអគ្គី សាសនាព្រះពុទ្ធ សាសនាខុងជឺ និងពួកអារ៉ាប់សម័យមុនគេបញ្ជូនមូហាំម៉ាត់ជាអ្នកនាំសារមកកាន់ពួកគេផងដែរ។



ប្រជាជាតិនីមួយៗមានចំណេះដឹងនិងការអនុវត្តតាមអ្វីដែលមានប្រយោជន៍ដល់ការរស់នៅរបស់ពួកគេនៅក្នុងលោកីយ៍នេះ។ នេះគឺជាការចង្អុលបង្ហាញទូទៅ ដែលអល់ឡោះជាម្ចាស់ទ្រង់បានប្រទានដល់មនុស្សគ្រប់រូប។ មិនតែប៉ុណ្ណោះ សូម្បីតែសត្វឃាត ក៏ទ្រង់បានបង្ហាញផ្លូវដល់វាដែរ។ ជាមួយនោះទ្រង់បានចង្អុលបង្ហាញដល់សត្វឃាត ឱ្យចេះស្វែងរកចំណីអាហារនិងចេះការពារខ្លួនពីគ្រោះថ្នាក់។ ទ្រង់បង្កើត

មនុស្សឱ្យចេះស្រលាញ់ផលប្រយោជន៍ និងបារម្ភចំពោះគ្រោះថ្នាក់ផ្សេងៗ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ سَبِّحِ ٱسْمَ رَبِّكَ ٱلْأَعْلَى ۝١ ٱلَّذِى خَلَقَ فَسَوَّىٰ ۝٢ وَٱلَّذِى قَدَّرَ فَهَدَىٰ ۝٣ ﴾ سورة الأعلى: ١ - ٣

មានន័យថា ៖ *«ព្រះនាមដ៏ខ្ពង់ខ្ពស់របស់ព្រះជាម្ចាស់របស់អ្នកដ៏មហាស្អាតស្អំ។ ទ្រង់ជាព្រះដែលបានបង្កើតសត្វលោក ហើយទ្រង់បានបង្កើតយ៉ាងសុក្រឹតឥតខ្ចោះ។ ទ្រង់បានកំណត់ក្រឹត្យក្រមលើអ្វីគ្រប់យ៉ាង ហើយទ្រង់ប្រទាននូវការចង្អុលបង្ហាញ»។*

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលអំពីមូសាដែលនិយាយទៅកាន់ស្ដេចផារ៉ាអុងថា ៖

﴿ قَالَ رَبُّنَا ٱلَّذِىٓ أَعْطَىٰ كُلَّ شَىْءٍ خَلْقَهُۥ ثُمَّ هَدَىٰ ۝٥٠ ﴾ سورة طه: ٥٠

មានន័យថា ៖ *«មូសាបាននិយាយថា ព្រះជាម្ចាស់របស់យើងគឺជាព្រះដែលបានប្រទានកំណើតដល់អ្វីគ្រប់យ៉ាង។ បន្ទាប់មកទ្រង់ប្រទាននូវការចង្អុលបង្ហាញ»។*

អល់ឡោះជាម្ចាស់បានមានបន្ទូលអំពីណាពីអ៊ីព្រហ៊ីមដែលបាននិយាយថា ៖

﴿ ٱلَّذِى خَلَقَنِى فَهُوَ يَهْدِينِ ۝٧٨ ﴾ سورة الشعراء: ٧٨

មានន័យថា ៖ *«ព្រះជាម្ចាស់ទ្រង់បានបង្កើតរូបខ្ញុំ ហើយទ្រង់បានប្រទានការចង្អុលបង្ហាញដល់ខ្ញុំ»។*

ជាទូទៅសម្រាប់អ្នកដែលមានបញ្ញាក៏មានការត្រិះរិះពិចារណាយ៉ាងហោចណាស់ថា អ្នកដែលមានសាសនា និងមានចំណេះដឹង អាចប្រតិបត្តិអំពើល្អពេញលក្ខណៈប្រសើរជាងអ្នកដែលគ្មានសាសនា។ សេ

ចក្តីល្អដែលមានចំពោះអ្នកមិនមែនមូស្លីមដែលកាន់សាសនាផ្សេងៗគឺពួកអ្នកមូស្លីមមានលក្ខណៈពេញលេញនិងសុក្រឹតជាងពួកគេ។ ចំណេះដឹង និងអំពើល្អដែលពួកអ្នកកាន់សាសនាមាន គឺពួកអ្នកគ្មានសាសនាមិនមាននោះទេ ពីព្រោះចំណេះដឹង និងអំពើល្អមានពីរប្រភេទ៖

**ប្រភេទទី១**. ចំណេះដឹងដែលទទួលបានតាមរយៈបញ្ញា ដូចជាគណិតវិទ្យា វេជ្ជសាស្ត្រ ឧស្សាហកម្ម។ ចំណេះដឹងទាំងនេះពួកអ្នកកាន់សាសនាក៏មានដូចអ្នកដទៃដែរ។ មិនតែប៉ុណ្ណោះពួកគេមានលក្ខណៈពេញលេញជាង។ រីឯចំណេះដឹង ដែលមិនអាចចេះដោយការប្រើបញ្ញាតែមួយមុខ គឺដូចជាចំណេះដឹងទាក់ទងនឹងព្រះជាម្ចាស់ ចំណេះដឹងខាងសាសនា គឺជាលក្ខណៈពិសេសរបស់ពួកអ្នកកាន់សាសនា។ ចំណេះដឹងនេះមិនអាចប្រើអំណះអំណាងផ្នែកបញ្ញាញាណបានទេ។ពួកអ្នកនាំសារទាំងឡាយបានចង្អុលបង្ហាញ និងណែនាំមនុស្សលោកឱ្យសង្កេតទៅលើភស្តុតាងផ្នែកបញ្ញាដែលបញ្ជាក់ពីរឿងនេះគឺជាភស្តុតាងផ្នែកបញ្ញាដែលស្របនឹងច្បាប់សាសនា។



**ប្រភេទទី២**. ចំណេះដឹងដែលមិនអាចដឹងបាន លុះត្រាតែតាមរយៈការផ្សព្វផ្សាយរបស់អ្នកនាំសារ។ គេគ្មានមធ្យោបាយដើម្បីទទួលបានចំណេះដឹងនេះតាមរយៈបញ្ញានោះទេ ដូចជាដំណឹងអំពីអល់ឡោះជាម្ចាស់ ព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់ បញ្ហាឋានសួគ៌និងឋាននរកនាថ្ងៃបរលោក ការបកស្រាយអំពីបញ្ញត្តិច្បាប់ ដំណឹងអំពីពួកណាពីជំនាន់មុននិងជាតិសាសន៍របស់ពួកគាត់។

# បច្ចុប្បន្នភាពសាសនាផ្សេងៗ

សាសនាដ៏ឧត្តុង្គឧត្តមផ្សេងៗដែលមានក្នុងទំព័រប្រវត្តិសាស្ត្រដ៏យូរលង់ និងច្បាប់បញ្ញត្តិពីបុរាណ បានក្លាយទៅជារំពារបស់ពួកមនុស្សទុច្ចរិតខិលខូច ជាល្បែងកម្សាន្តរបស់ពួកអ្នកកែប្រែនិងពួកក្បត់សាសនា។ ដោយសារមានការប្រឈមជាប្រចាំ និងរឿងអកុសលជាច្រើនទើបធ្វើឱ្យសាសនានេះបាត់បង់ខ្លឹមសារ និងទម្រង់ដើមរបស់វា។ បើសិនគេធ្វើឱ្យពួកអ្នកកាន់សាសនាជំនាន់មុនរស់ឡើងវិញ មកជួបពួកជំនាន់ក្រោយ ពួកគេនឹងបដិសេធ ហើយមិនទទួលស្គាល់សាសនាទាំងនេះឡើយ។

- សាសនាជ្វីហ្វបានក្លាយទៅជាពិធីសាសនាមួយ និងជាប្រពៃណីមួយដែលគ្មានខ្លឹមសារ។ វាក្លាយជាជីវិតដែលគ្មានវិញ្ញាណ។ លើសពីនេះវាគឺជាសាសនាអំបូរនិយមសម្រាប់តែជាតិសាសន៍មួយ ជាពិសេសមិនមែនជាសាសនាសកល។ វាមិនធ្វើការអំពាវនាវដល់សាសន៍ដទៃ ហើយមិនបានផ្សព្វផ្សាយក្តីមេត្តាករុណានេះដល់មនុស្សជាតិផងដែរ។
- ជាសាសនាមួយដែលត្រូវបានទទួលរងការកែប្រែឱ្យខុសពីជំនឿដើមដែលជាអត្តសញ្ញាណមួយខុសពីសាសនាដទៃនិងជាតិសាសន៍ដទៃ។ ក្នុងជំនឿនេះមានអាថ៌កំបាំងដែលជាមោទនភាព គឺជំនឿឯកទិទេពនិយម ដែលណាពីអ៊ីព្រហ៊ីមបានផ្តែផ្តាំចំពោះកូនរបស់គាត់ឈ្មោះ**យ៉ាក់កូប**។ ពួកជ្វីហ្វក៏





បានទទួលឥទ្ធិពលជំនឿខុសនេះ មកពីសាសន៍ផ្សេងៗ ដែលរស់នៅជាមួយពួកគេ ឬឋិតនៅក្រោមការត្រួតត្រា របស់គេ។ ភាគច្រើននៃទំនៀមទម្លាប់របស់ពួកគេ គឺត្រាប់តាមជំនឿរបស់ពួកអ្នកមានជំនឿលើអរូបីវិជ្ជា។ ពួកប្រវត្តិវិទូជ្វីហ្វខ្លះ ដែលមិនលម្អៀងបានទទួលស្គាល់ពីបញ្ហានេះ។ បញ្ហានេះមានសរសេរក្នុង (សព្វវចនាធិប្បាយជ្វីហ្វ) ដែលមានខ្លឹមសារដូចខាងក្រោមៈ

- ពិតណាស់កំហឹងនិងការខឹងសម្បាររបស់ពួកណាពីចំពោះការគោរពបូជាជំនឿអរូបីបញ្ជាក់ឱ្យឃើញថា ជំនឿអរូបីនិងជំនឿពហុទេពនិយម គឺបានជ្រាបចូលមកក្នុងជំនឿរបស់ពួកអ៊ីស្រាអែល។ពួកគេបានទទួលជំនឿពហុទេពនិងជំនឿអរូបី។ ក្នុងគម្ពីរតាល់មូតក៏បានអះអាងថា ជំនឿអរូបីមានការទាក់ទាញខ្លាំង ជាពិសេសសម្រាប់ពួកជ្វីហ្វ។
- គម្ពីរតាល់មូត ពួកជ្វីហ្វបានលើកតម្កើងយ៉ាងខ្លាំង និងឱ្យតម្លៃគម្ពីរនេះលើសពីគម្ពីរតាវរ៉ត។ គម្ពីរនេះមានប្រើប្រាស់ក្នុងសង្គមជ្វីហ្វនៅសតវត្សទី៦គ.ស។ ក្នុងគម្ពីរនេះមានគំរូប្លែកៗដែលបង្ហាញពីភាពល្ងង់ខ្លៅ ពាក្យសម្តីអាសគ្រាម ប្រមាថចំពោះអល់ឡោះ លេងសើចនឹងសច្ចភាព ប្រមាថមើលងាយសាសនា និងបញ្ញា នៃសង្គមជ្វីហ្វដែលបានធ្លាក់ដុនដាបខាងផ្នែកជំនឿសាសនានាសតវត្សនោះ។

○ សាសនាគ្រិស្តវិញទទួលរងការកែប្រែពីពួកជ្រុលនិយម និងការបកស្រាយរបស់ពួកមនុស្សអវិជ្ជា។ ជំនឿអរូបីរបស់ពួករ៉ូម៉ាំងបានប្តូរមកកាន់គ្រីស្ទានតាំងពីសម័យដំបូង។ ទាំងនេះបានក្លាយជាគំនរនៃជំនឿខុស ដែលគេកប់ចោលពាក្យទូន្មានប្រៀនប្រដៅរបស់យេស៊ូ និងពន្លឺនៃជំនឿឯកទេវៈ។ ការគោរពសក្ការៈចំពោះអល់ឡោះដ៏ជ្រះថ្លា ត្រូវបានរលត់បាត់ស្រមោលនៅពីក្រោយផ្ទាំងពពកដ៏ក្រាស់ឃ្មឹកនេះ។

○ អ្នកនិពន្ធគ្រិស្តសាសនិកម្នាក់ បានពណ៌នាអំពីទំហំនៃការជ្រាបចូលរបស់ជំនឿត្រីម៉ិត(ព្រះបិតា ព្រះមាតា និងព្រះបុត្រា)ក្នុងសង្គមពួកអ្នកកាន់សាសនាគ្រីស្ទានតាំងពីចុងសតវត្សទី៤គ.ស។គាត់បានសរសេរថា :«ការជ្រាបចូលនៃជំនឿដែលថាព្រះតែមួយផ្គុំឡើងដោយព្រះបីអង្គក្នុងពិភពគណៈសង្ឃគ្រីស្ទាននិងផ្នត់គំនិត បានកើតឡើងតាំងពីចុងសតវត្សទី៤នៃគ.ស។ជំនឿនេះជាបន្តបន្ទាប់បានក្លាយជាជំនឿផ្លូវការគេទទួលស្គាល់ជាទូទៅក្នុងគ្រីស្ទាន។ គេពុំទាន់បានបើកទម្លាយបញ្ហានៃការវិវត្ត និងអាថ៌កំបាំងនៃជំនឿត្រីម៉ិតនេះទេ រហូតដល់ពាក់កណ្តាលទី២ នៃសតវត្សទី១៩ គ.ស។

ប្រវត្តិវិទូគ្រិស្តសាសនិកនៅសម័យបច្ចុប្បន្នម្នាក់បានសរសេរក្នុងសៀវភៅប្រវត្តិសាសនាគ្រិស្តយោងតាមចំណេះដឹងបច្ចុប្បន្ន ដែលនិយាយអំពីការលេចឡើងនៃជំនឿពហុទេពក្នុងសង្គមគ្រីស្ទាន ជាទិដ្ឋភាព និងរូបភាពផ្សេងៗគ្នា។ គ្រិស្តសាសនាបានប្រើសិល្បៈក្នុងការ

ទាញយកអត្តសញ្ញាណ ទំនៀមទម្លាប់ ពិធីបុណ្យ និងវីរៈបុរសក្នុងជំនឿពហុទេពនៃជាតិសាសន៍ និងសាសនាចំណាស់ផ្សេងៗទាក់ទងនឹងអំពើពហុទេព ក្នុងន័យត្រាប់តាម ឬចាប់អារម្មណ៍ ឬដោយភាពល្ងង់ខ្លៅ។ លោកបានបន្តថា ជំនឿពហុទេពបានផុតរលត់ហើយ តែពុំទាន់រលត់បាត់ទាំងស្រុងនោះទេ។ មិនតែប៉ុណ្ណោះជំនឿនេះ បានជ្រាបទៅក្នុងផ្នត់គំនិត ហើយបានបន្តមានវត្តមានរបស់ខ្លួនក្នុងនាមជាសាសនាគ្រិស្តក្នុងរូបភាពជាសាសនាគ្រិស្ត។ ពួកអ្នកដែលបោះបង់ចោលការគោរពព្រះបដិមា និងជំនឿខុស ពួកគេបានទទួលយកអ្នកពលីជីវិតម្នាក់នៃពួកអ្នកពលីជីវិតរបស់ពួកគេ ហើយដាក់ងារអ្នកពលីនោះជាព្រះ។ បន្ទាប់មកបង្កើតរូបតំណាងសម្រាប់គាត់។ បែបនេះដែលជំនឿពហុទេព និងការគោរពរូបបដិមាបានជ្រាបចូលទៅក្នុងរូបតំណាង នៃពួកអ្នកពលីជីវិតក្នុងប្រទេសទាំងនោះ។ ជំនាន់នោះមិនទាន់ផុតទៅផង ស្រាប់តែការគោរពបូជាពួកបព្វជិតដែលពលីជីវិតទាំងនោះបានរីកសុសសាយ ហើយបង្កើតបានជាជំនឿសាសនាថ្មី។ ពួកគេជឿថាបព្វជិតសាសនាទាំងនោះមានលក្ខណៈសម្បត្តិជាព្រះជាម្ចាស់។ ពួកបព្វជិតទាំងនោះជាមធ្យោបាយរវាងព្រះជាម្ចាស់ និងមនុស្សលោក។ ពួកគេបានផ្លាស់ប្តូរឈ្មោះពិធីបុណ្យជំនឿពហុទេពចាស់មកជាឈ្មោះថ្មីរហូតដល់ឆ្នាំ៤០០គ.ស។ ពិធីបុណ្យព្រះអាទិត្យនាសម័យបុរាណបានក្លាយទៅជាបុណ្យខួបកំណើតរបស់យេស៊ូទៅវិញ។

ចំណែកសាសនាព្រះអគ្គីវិញ គេស្គាល់តាំងពីបុរាណកាលរៀងមកគឺការគោរពបូជាធាតុធម្មជាតិពីរ ដែលធាតុទីមួយធំបំផុតនោះគឺភ្លើង។

ចុងក្រោយពួកគេបានគោរពបូជាចំពោះភ្លើង។ ពួកគេបានសាងសង់ប្រាសាទនិងទីសក្ការៈសម្រាប់ភ្លើង។ បន្ទាប់មកវិហារព្រះអគ្គីបានរីកសុសសាយពាសពេញប្រទេស។ រីឯជំនឿនិងសាសនាផ្សេងពីការគោរពដល់ព្រះអគ្គី និងការបូជាព្រះអាទិត្យបានផុតរលត់ ហើយសាសនាផ្សេងដែលនៅសេសសល់នោះ គ្រាន់តែជាពិធីប្រារព្ធបែបប្រពៃណី ទំនៀមទម្លាប់ ដែលពួកគេប្រារព្ធធ្វើឡើងដោយឡែកនៅតាមតំបន់ផ្សេងៗ។

អ្នកនិពន្ធសៀវភៅអ៊ីរ៉ង់ក្នុងសម័យសាសានីន ជនជាតិដាណឺម៉ាក បាននិយាយពីវណ្ណៈមេដឹកនាំសាសនា និងតួនាទីរបស់ពួកគេ។ លោកបានសរសេរថា : « ចាំបាច់លើពួកបុគ្គលិករាជការទាំងអស់ ត្រូវគោរពបូជាព្រះអាទិត្យចំនួនបួនដងក្នុងមួយថ្ងៃ។ បន្ថែមពីលើនេះ គឺពួកគេនាំគ្នាគោរពបូជាព្រះចន្ទ្រ ភ្លើង និងទឹក។ ពួកគេត្រូវបានបង្គាប់ឱ្យរក្សាភ្លើងឱ្យឆេះរហូតមិនរលត់។មិនត្រូវឱ្យទឹកនិងភ្លើងប៉ះគ្នាទៅវិញទៅមក។ មិនត្រូវទុកចោលលោហធាតុឱ្យច្រេះចាប់ ពីព្រោះពួកគេលើកតម្កើងលោហធាតុ»។

ពិតណាស់ គ្រប់សម័យកាលនីមួយៗពួកគេបានប្រកាន់នូវជំនឿទ្វេនិយម ហើយលទ្ធិទ្វេនិយមនេះបានក្លាយទៅជាអត្តសញ្ញាណសាសនាសម្រាប់ពួកគេ។ ពួកគេមានជំនឿលើព្រះពីរ ព្រះទី១គឺពន្លឺឬហៅម្យ៉ាងទៀតថាព្រះល្អ។ ពួកគេឱ្យឈ្មោះព្រះនេះ «អះវើរម៉ាសដា» ឬ« យ៉ាសដាន»។ ទី២ព្រះងងឹតឬព្រះអាក្រក់មានឈ្មោះថា«អះរ៉ាម៉ាន់»

ហើយសង្គ្រាមរវាងព្រះទាំងពីរនេះកើតឡើងជារៀងរហូត មិនចេះចប់មិនចេះហើយ។

ចំណែកឯសាសនាព្រះពុទ្ធវិញ គឺជាសាសនាដែលរីកសុសសាយនៅប្រទេសឥណ្ឌា និងអាស៊ីកណ្តាល។ វាជាសាសនាគោរពបូជារូបបដិមា។ ទីណាមានសាសនានេះទីនោះពិតជាមានរូបសំណាកព្រះពុទ្ធ។ គេសាងសង់វត្តអារ៉ាម និងដាក់តម្កល់ព្រះពុទ្ធរូបក្នុងវត្តទាំងនោះ។

ឯចំណែកព្រហ្មញ្ញសាសនាវិញ គឺជាសាសនារបស់ពួកឥណ្ឌា។ សាសនានេះល្បីល្បាញខាងសម្បូររូបបដិមានិងរូបព្រះច្រើន។ ជំនឿពហុទេពក្នុងសាសនានេះបានរីកចម្រើនដល់កំពូល នៅក្នុងសតវត្សទី៦ គ.ស. មានព្រះបដិមារហូតដល់៣៣០លាន។ អ្វី១គ្រប់យ៉ាងដែលល្អអស្ចារ្យ សម្បើម មានប្រយោជន៍សុទ្ធតែជាព្រះដែលគេត្រូវគោរពបូជា។ម្យ៉ាងទៀត សិប្បកម្មផលិតរូបបដិមាក្នុងសម័យនោះក៏រីកចម្រើន និងមានវិចិត្រករចម្លាក់ល្បី១ផងដែរ។



លោកសីរីវេទជាអ្នកកាន់ព្រហ្មញ្ញសាសនា។ នៅក្នុងសៀវភៅប្រវត្តិឥណ្ឌាកណ្តាលរបស់លោកបានសរសេរអំពីរជ្ជកាលស្តេចហេរស្ស (៦០៦គ.ស ដល់ ៦៤៨គ.ស.) គឺជាសម័យកាលដែលបន្ទាប់ពីនោះសាសនាឥស្លាមបានរះឡើងនៅឧបទ្វីបអារ៉ាប់។ លោកបានសរសេរថា : «កាលសម័យនោះសាសនាព្រហ្មញ្ញ និងសាសនាព្រះពុទ្ធ គឺជាសាសនាពីរដែលគោរពរូបបដិមាដូចគ្នា។ ជួនពេលខ្លះសាសនាព្រះពុទ្ធគោរពរូបបដិមាខ្លាំងជាងសាសនាព្រហ្មញ្ញ។ សាសនានេះដំបូងឡើយបដិសេធថាមិនមានព្រះ ក៏ប៉ុន្តែក្រោយមកម្តងបន្តិច១បានលើកព្រះ

ពុទ្ធជាព្រះធំ និងព្រះផ្សេងបន្ថែមទៀតដូចជាព្រះពោធិសត្វ។ ជំនឿលើរូបសំណាកព្រះបដិមានេះ បានរីកចម្រើន ដល់កំពូលនៅឥណ្ឌា រហូតដល់ពាក្យ«ពុទ្ធ» ក្លាយទៅជាមានន័យស្មើនឹងរូបបដិមា ឬរូបសំណាកក្នុងភាសាបូព៌ាខ្លះ»។

ជាការពិតណាស់ ជំនឿលើព្រះបដិមា គឺជាជំនឿដែលរីកសុសសាយក្នុងពិភពលោកបច្ចុប្បន្ន។ ពិភពលោកទាំងមូលតាំងពីមហាសមុទ្រអាត្លង់ទិក រហូតដល់មហាសមុទ្រប៉ាស៊ីហ្វិកពោរពេញដោយជំនឿលើព្រះបដិមា។ សាសនាគ្រិស្ត សាសនាពួកសេមេទិក និងសាសនាព្រះពុទ្ធបានប្រកួតប្រជែងគ្នាក្នុងការលើកតម្កើង និងគោរពបូជាចំពោះរូបបដិមា។ រូបបដិមាប្រៀបដូចជាសេះប្រណាំងដែលឋិតក្នុងទីលានប្រណាំងសេះតែមួយ។

អ្នកកាន់ព្រហ្មញ្ញសាសនាម្នាក់ទៀតបានសរសេរក្នុងសៀវភៅ **ព្រហ្មញ្ញ** គឺជាសាសនានាំមុខរបស់គាត់ថា :«ការផលិតរូបបដិមាព្រះ ពុំបានបញ្ឈប់នៅត្រឹមហ្នឹងទេ តែនៅបន្តដាក់បញ្ចូលនូវរូបដិមាព្រះតូចៗផ្សេងទៀតក្នុងសម័យកាលខុសៗគ្នានៃប្រវត្តិសាស្ត្រ បានក្លាយជាសង្គមព្រះមួយដែលមានរូបបដិមាច្រើនរហូតដល់មិនអាចគណនានិងរាប់ចំនួនបាន»។

ទាំងអស់នេះទាក់ទងនឹងបញ្ហាសាសនាផ្សេងៗ។ និយាយពីប្រទេសដែលមានអរិយធម៌រុងរឿងដែលមានរាជការគ្រប់គ្រងធំៗបានរីកចម្រើនខាងផ្នែកវិទ្យាសាស្ត្រ និងចំណេះដឹងដែលជាជង្រុកនៃវប្បធម៌ ឧស្សាហកម្ម និងសិល្បៈវិញ។ ប្រទេសទាំងនោះបានក្លាយជា

ប្រទេសដែលលុបបំបាត់ចោលនូវជំនឿសាសនា បាត់បង់លក្ខណៈដើម នៃសាសនា និងមិនមានសក្តានុពល ហើយអ្នកដែលស្តារសាសនាឡើងវិញក៏បាត់បង់ អ្នកបង្រៀនសាសនាក៏គ្មាន។ ម៉្យាងវិញទៀត ភាពទមិឡ មិនជឿសាសនាបានប្រកាសយ៉ាងបើកចំហ និងអំពើពុករលួយក្នុងសង្គមក៏កើតមានច្រើន។ បទដ្ឋានទាំងឡាយរបស់សង្គមត្រូវបានផ្លាស់ប្តូរ។ មនុស្សបែរជាប្រមាថមើលងាយចំពោះតម្លៃរបស់ខ្លួន។ ដូច្នេះទើបការធ្វើអត្តឃាតបានកើនឡើង ចំណងមេត្រីភាពគ្រួសារត្រូវបានកាត់ផ្តាច់។ ទំនាក់ទំនងសង្គមបានរង្គោះរង្គើ គ្មានភាពសុខដុម ដែលជាហេតុធ្វើឱ្យកើនឡើងកាន់តែច្រើននូវគ្លីនិកព្យាបាលជំងឺផ្លូវចិត្ត និងមានទីផ្សារគ្រូមន្តអាគមអូមអាម ធ្វើឱ្យមនុស្សសាកល្បងគ្រប់រូបភាព ហើយដើរតាមលទ្ធិទាំងឡាយដែលគេបានបង្កើតថ្មីក្នុងគោលបំណង ដើម្បីរកសេចក្តីស្កប់ស្កល់ដល់ផ្លូវចិត្តនិងសុភមង្គលរបស់ខ្លួន។ ទោះជាគេខំយ៉ាងណា លទ្ធិនិងមនោគមទាំងនោះមិនអាចជួយសម្រេចនូវបំណងប្រាថ្នារបស់ពួកគេឡើយ។ លើសពីនេះ វាសនាអភ័ព្វ ភាពសោកសៅ ទារុណកម្មផ្លូវចិត្ត នៅតែកើតមានក្នុងចិត្តនិងដួងវិញ្ញាណទាំងនេះរហូត លុះត្រាគេផ្សារភ្ជាប់នឹងព្រះជាម្ចាស់ ដែលទ្រង់ជាអ្នកបង្កើតទើបបានស្កប់។ ការគោរពសក្ការៈចំពោះទ្រង់តាមមាគ៌ាដែលទ្រង់បានទទួលស្គាល់សម្រាប់ព្រះអង្គ និងអ្វីដែលទ្រង់បានបង្គាប់ទៅពួកអ្នកនាំសាររបស់ទ្រង់។ ទ្រង់បានមានព្រះបន្ទូលបកស្រាយពីសភាពពួកអ្នកដែលងាកចេញពីទ្រង់ និងស្វែងរកការចង្អុលបង្ហាញក្រៅពីទ្រង់ថា :

﴿ وَمَنۡ أَعۡرَضَ عَن ذِكۡرِي فَإِنَّ لَهُۥ مَعِيشَةٗ ضَنكٗا وَنَحۡشُرُهُۥ يَوۡمَ ٱلۡقِيَٰمَةِ أَعۡمَىٰ ١٢٤ ﴾
سورة طه: ١٢٤

មានន័យថា :«*នរណាបានងាកចេញពីសេចក្ដីក្រើនរំឭករបស់យើង ពិតណាស់សម្រាប់អ្នកនោះគឺជីវិតរស់នៅដ៏ងងឹតសូន្យសុង ហើយនៅថ្ងៃបរលោក យើងនឹងបង្កើតគេឱ្យរស់ឡើងវិញក្នុងសភាពខ្វាក់ភ្នែក*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលប្រាប់ពីសេចក្ដីសុខរបស់ពួកអ្នកមានជំនឿ និងសុភមង្គលរបស់ពួកគេក្នុងការរស់នៅថា :

﴿ ٱلَّذِينَ ءَامَنُواْ وَلَمۡ يَلۡبِسُوٓاْ إِيمَٰنَهُم بِظُلۡمٍ أُوْلَٰٓئِكَ لَهُمُ ٱلۡأَمۡنُ وَهُم مُّهۡتَدُونَ ٨٢ ﴾ سورة الأنعام: ٨٢

មានន័យថា :«*ពួកអ្នកដែលមានជំនឿ ហើយមិនច្របល់ចូលគ្នារវាងជំនឿរបស់ពួកគេជាមួយអំពើពហុទេព គឺពួកគេជាពួកអ្នកដែលទទួលបានសេចក្ដីសុខ ហើយជាពួកអ្នកដែលទទួលបាននូវការចង្អុលបង្ហាញ*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ وَأَمَّا ٱلَّذِينَ سُعِدُواْ فَفِي ٱلۡجَنَّةِ خَٰلِدِينَ فِيهَا مَا دَامَتِ ٱلسَّمَٰوَٰتُ وَٱلۡأَرۡضُ إِلَّا مَا شَآءَ رَبُّكَۖ عَطَآءً غَيۡرَ مَجۡذُوذٖ ١٠٨ ﴾ سورة هود: ١٠٨

មានន័យថា : «*រីឯពួកអ្នកដែលអល់ឡោះជាម្ចាស់បានប្រទានសុភមង្គលដល់ពួកគេ គឺពួកគេបានចូលរស់នៅក្នុងឋានសួគ៌ជាអមតៈដរាបណានៅតែមានមេឃនិងផែនដី លើកលែងពួកអ្នកដែលទ្រង់ប្រាថ្នាចង់ពន្យារ គឺពួកអ្នកប្រព្រឹត្តអំពើបាបកម្មនៃពួកអ្នកមានជំនឿឯកទិទេព*

*ទ្រង់ដាក់ពួកគេក្នុងភ្លើងនរកមួយរយៈ បន្ទាប់មកទ្រង់យកចេញទៅកាន់ឋានសួគ៌។ នោះជាការប្រទានដែលមិនងាយសាបសូន្យ»។*

សាសនាទាំងឡាយក្រៅពីឥស្លាម បើយើងយកបទដ្ឋានសាសនាដែលបានលើកឡើងខាងលើទៅពិចារណា យើងនឹងឃើញថា សាសនាទាំងនោះបាត់បង់នូវបទដ្ឋានភាគច្រើន ដូចដែលបានបកស្រាយប្រាប់ដោយសង្ខេបពីខាងដើម។

ចំណុចចម្បងដែលសាសនាទាំងនោះបោះបង់ចោលគឺជំនឿឯកទិទេពចំពោះអល់ឡោះជាម្ចាស់ ជាហេតុធ្វើឱ្យសាសនិករបស់ខ្លួនគោរពជំនឿពហុទេព រួមចំណែកជាមួយនឹងអល់ឡោះជាម្ចាស់។ ម៉្យាងវិញទៀតសាសនាដែលគេកែប្រែនេះពុំបានផ្តល់ច្បាប់បញ្ញត្តិត្រឹមត្រូវដល់មនុស្សលោកសម្រាប់គ្រប់សម័យកាលនិងទីកន្លែងទេ។ វាជាច្បាប់ដែលរក្សាការពារសាសនា កិត្តិយស ទ្រព្យសម្បត្តិ អាយុជីវិតរបស់ពួកគេ។ សាសនាទាំងនោះមិនបានចង្អុលបង្ហាញដល់ពួកគេទៅរកច្បាប់របស់អល់ឡោះដែលទ្រង់បានបង្គាប់ប្រើ ហើយក៏មិនបានផ្តល់នូវភាពស្កប់ស្កល់ និងសុភមង្គលចំពោះអ្វីដែលពួកគេកំពុងប្រឈមមុខនិងភាពវឹកវរ ច្របូកច្របល់ ក្នុងសង្គមរស់នៅ។

ចំណែកសាសនាឥស្លាមវិញ យើងខ្ញុំនឹងធ្វើការបកស្រាយយ៉ាងពិស្តារ ក្នុងជំពូកខាងមុខដែលនឹងបំភ្លឺថា សាសនារបស់អល់ឡោះ គឺជាសាសនាពិតនិងស្ថិតស្ថេរដែលទ្រង់សព្វព្រះទ័យសម្រាប់ព្រះអង្គផ្ទាល់ និងសម្រាប់មនុស្សជាតិទូទៅ។

ទីបញ្ចប់នៃជំពូកនេះ ខ្ញុំសូមណែនាំឱ្យស្គាល់ពីសច្ចភាពនៃភាពក្លាយជាណាពីនិងសញ្ញាភស្តុតាង ព្រមទាំងតម្រូវការរបស់មនុស្សចំពោះការបញ្ជូនណាពី។ លើសពីនេះយើងនឹងបញ្ជាក់អំពីឫសគល់ការនៃអំពាវនាវរបស់ពួកអ្នកនាំសារនិងសច្ចភាពនៃសារដ៏អមតៈចុងក្រោយបង្អស់។

## សច្ចភាពនៃភាពក្លាយជាណាពី

កាតព្វកិច្ចដ៏ធំបំផុតរបស់មនុស្សត្រូវស្គាល់ក្នុងជីវិតរស់នៅរបស់គេ គឺការស្គាល់ព្រះជាម្ចាស់ដែលបានបង្កើតរូបគេពីគ្មានឱ្យមកកើតជាមនុស្ស ហើយទ្រង់បានប្រទានពរជ័យដ៏ច្រើនសន្ធឹកសន្ធាប់ដល់រូបគេ។ គោលបំណងសំខាន់បំផុតដែលទ្រង់បានបង្កើតសត្វលោក គឺដើម្បីឱ្យសត្វលោកគោរពសក្ការៈចំពោះទ្រង់ជាព្រះជាម្ចាស់តែមួយគត់។

ក៏ប៉ុន្តែធ្វើដូចម្តេចទើបមនុស្សអាចស្គាល់ព្រះជាម្ចាស់របស់គេយ៉ាងពិតប្រាកដនោះ? តើអ្វីជាសិទ្ធិ និងកាតព្វកិច្ចដែលមនុស្សត្រូវបំពេញសម្រាប់ព្រះអង្គ ហើយត្រូវប្រតិបត្តិចំពោះទ្រង់យ៉ាងដូចម្តេច? មនុស្សលោកអាចជួបប្រទះនឹងអ្នកដែលជួយសង្គ្រោះគេពីបញ្ហាទាំងឡាយក្នុងការរស់នៅ ផ្តល់ផលប្រយោជន៍សម្រាប់រូបគេដូចជាការព្យាបាលជំងឺ ជូនថ្នាំព្យាបាល ជួយសាងសង់ផ្ទះសម្បែង កន្លែងស្នាក់នៅ។ល។ ក៏ប៉ុន្តែមនុស្សទូទៅពុំបានជួបប្រទះនឹងអ្នកដែលជួយពន្យល់ណែនាំឱ្យគេស្គាល់ព្រះជាម្ចាស់របស់គេ បញ្ជាក់ប្រាប់ពីរបៀបនៃការគោរពប្រណិប័តន៍ចំពោះព្រះជាម្ចាស់។ ពីព្រោះបញ្ញារបស់មនុស្សមិន

អាចនៅដាច់ដោយឡែកពីការស្គាល់ពីបំណងប្រាថ្នារបស់អល់ឡោះជាដាច់ខាត។ បញ្ញារបស់មនុស្សទន់ខ្សោយ សូម្បីបំណងប្រាថ្នារបស់មនុស្សដូចគ្នាក៏មើលមិនយល់ដែរ បើសិនជាគេពុំបានប្រាប់ជាមុននោះ។ ចុះទម្រាំការស្គាល់ពីបំណងប្រាថ្នារបស់អល់ឡោះ? ដោយហេតុថា ភារកិច្ចកំណត់តែទៅលើពួកអ្នកនាំសារ និងពួកណាពីដែលទ្រង់បានជ្រើសរើសពួកគេជាអ្នកនាំសាររបស់ទ្រង់ និងពួកអ្នកជំនាន់ក្រោយកាន់តាមការចង្អុលបង្ហាញរបស់ពួកគេ ដែលជាអ្នកទទួលភារកិច្ចបន្ត។ ពួកអ្នកស្នងកេរមតិកពីពួកណាពីដែលដើរតាមមាគ៌ារបស់ពួកគេ យកតម្រាប់តាមកេរដំណែលរបស់ពួកគេ ហើយដើរផ្សព្វផ្សាយសារជំនួសពួកគេ ពីព្រោះមនុស្សមិនទទួលយកការត្រាស់បន្ទូលពីអល់ឡោះជាម្ចាស់ដោយផ្ទាល់បានឡើយ។ ពួកគេគ្មានលទ្ធភាពជាដាច់ខាត។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ وَمَا كَانَ لِبَشَرٍ أَن يُكَلِّمَهُ ٱللَّهُ إِلَّا وَحۡيًا أَوۡ مِن وَرَآيِٕ حِجَابٍ أَوۡ يُرۡسِلَ رَسُولًا فَيُوحِيَ بِإِذۡنِهِۦ مَا يَشَآءُۚ إِنَّهُۥ عَلِيٌّ حَكِيمٌ ٥١ ﴾ سورة الشورى: ٥١

មានន័យថា ៖ *«មិនសក្តិសមទេសម្រាប់មនុស្សនិយាយដោយផ្ទាល់ជាមួយនឹងអល់ឡោះ លើកលែងតាមរយៈការត្រាស់បន្ទូលឬនិយាយចេញពីក្នុងវាំងននឬទ្រង់បញ្ជូនអ្នកនាំសារមក ហើយទ្រង់ត្រាស់បង្គាប់ដោយការអនុញ្ញាតរបស់ទ្រង់តាមតែទ្រង់សព្វព្រះទ័យ។ ពិតណាស់ទ្រង់មហាខ្ពង់ខ្ពស់ប្រកបដោយគតិបណ្ឌិត»។*

ភាពចាំបាច់ត្រូវតែមានទូតនាំសារជំនួសអល់ឡោះ នាំមកនូវច្បាប់បញ្ញត្តិរបស់ទ្រង់ទៅកាន់មនុស្សលោក។ ពួកទូតនាំសារទាំងនោះ

គឺពួកអ្នកនាំសារនិងពួកណាពី។ ទេវតាបាននាំសារពីអល់ឡោះជាម្ចាស់មកប្រគល់ជូនណាពី ហើយអ្នកនាំសារនោះបញ្ជូនសារជាបន្តទៅកាន់មនុស្សលោក។ ទេវតាមិនអាចនាំសារទាំងឡាយទៅជូនមនុស្សទូទៅដោយផ្ទាល់បានទេ។ ព្រោះលក្ខណៈសម្បត្តិពិភពទេវតាខុសពីពិភពមនុស្សលោក។ ដូចអល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ ٱللَّهُ يَصۡطَفِي مِنَ ٱلۡمَلَٰٓئِكَةِ رُسُلٗا وَمِنَ ٱلنَّاسِ ﴾ سورة الحج: ٧٥

មានន័យថាៈ *«អល់ឡោះជាម្ចាស់ជ្រើសរើសក្នុងចំណោមពួកទេវតាតែងតាំងជាអ្នកនាំសារ ហើយទ្រង់ជ្រើសរើស(អ្នកនាំសារ)ពីក្នុងចំណោមពួកមនុស្សផងដែរ»*។

គតិបណ្ឌិតរបស់អល់ឡោះតម្រូវឱ្យជ្រើសរើសអ្នកនាំសារចេញពីអំបូររបស់ពួកគេ ដើម្បីឱ្យពួកគេស្តាប់គ្នាបាន យោគយល់គ្នា អាចឱ្យពួកគេនិយាយទំនាក់ទំនងគ្នាបាន។ ប្រសិនបើអល់ឡោះជាម្ចាស់បញ្ជូនពួកទេវតាជាអ្នកនាំសារមកកាន់មនុស្សលោក គឺពួកគេមិនអាចមានការប្រាស្រ័យឆ្លើយឆ្លងគ្នា ហើយក៏មិនអាចទទួលយកអ្វីពីពួកគេបានដែរ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَقَالُواْ لَوۡلَآ أُنزِلَ عَلَيۡهِ مَلَكٞۖ وَلَوۡ أَنزَلۡنَا مَلَكٗا لَّقُضِيَ ٱلۡأَمۡرُ ثُمَّ لَا يُنظَرُونَ ٨ وَلَوۡ جَعَلۡنَٰهُ مَلَكٗا لَّجَعَلۡنَٰهُ رَجُلٗا وَلَلَبَسۡنَا عَلَيۡهِم مَّا يَلۡبِسُونَ ٩ ﴾ سورة الأنعام: ٨ - ٩

មានន័យថាៈ *«អ្នកគោរពពហុទេពបាននិយាយថា តើហេតុអ្វីបានជាអល់ឡោះមិនបញ្ចុះទេវតាមួយអង្គពីលើមេឃមកកាន់ណាពីមូហាំម៉ាត់បញ្ជាក់ពីភាពស្មោះត្រង់របស់គេ? បើសិនជាយើងបញ្ជូនទេវតាពីលើមេឃមក ឆ្លើយតបតាមការទាមទាររបស់ពួកគេ ម្ល៉េះវាសនានឹង*

*កំណត់ឱ្យពួកគេត្រូវវិនាស ហើយគេមិនទុកឱកាសឱ្យពួកគេសារភាពកំហុសនោះទេ។ បើសិនជាយើងបញ្ជូន ទេវតាមកក្នុងរូបភាពជាមនុស្សប្រុស ពួកគេច្បាស់ជានឹងមានការសង្ស័យដូចដែលពួកគេសង្ស័យចំពោះអ្នកនាំសារមូហាំម៉ាត់ដែរ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَمَآ أَرۡسَلۡنَا قَبۡلَكَ مِنَ ٱلۡمُرۡسَلِينَ إِلَّآ إِنَّهُمۡ لَيَأۡكُلُونَ ٱلطَّعَامَ وَيَمۡشُونَ فِي ٱلۡأَسۡوَاقِۗ وَجَعَلۡنَا بَعۡضَكُمۡ لِبَعۡضٖ فِتۡنَةً أَتَصۡبِرُونَۗ وَكَانَ رَبُّكَ بَصِيرٗا ٢٠ ۞ وَقَالَ ٱلَّذِينَ لَا يَرۡجُونَ لِقَآءَنَا لَوۡلَآ أُنزِلَ عَلَيۡنَا ٱلۡمَلَٰٓئِكَةُ أَوۡ نَرَىٰ رَبَّنَاۗ لَقَدِ ٱسۡتَكۡبَرُواْ فِيٓ أَنفُسِهِمۡ وَعَتَوۡ عُتُوّٗا كَبِيرٗا ٢١ ﴾

سورة الفرقان: ٢٠ - ٢١

មានន័យថា : *«យើងមិនបានបញ្ជូនពួកអ្នកនាំសារមុនឯងនោះឡើយ លើកលែងតែពួកគេចេះហូបចំណីអាហារ ចេះដើរផ្សារ។ យើងបានសាកល្បងពួកអ្នក ដោយការបង្កវិបត្តិចំពោះគ្នាទៅវិញទៅមក។ តើពួកអ្នកចេះអត់ធ្មត់ដែរឬទេ? ពិតណាស់ ព្រះជាម្ចាស់របស់អ្នកទ្រង់មានចក្ខុវិស័យច្បាស់លាស់។ ពួកអ្នកដែលគ្មានសង្ឃឹមជួបនឹងអល់ឡោះ បាននិយាយថា បើសិនជាគេបញ្ជូនពួកទេវតាមកកាន់ពួកយើង ឬយើងមើលឃើញព្រះជាម្ចាស់របស់យើង មកប្រាប់យើងពីសច្ចភាពនៃសាររបស់គេ។ ពិតណាស់ពួកគេក្រអឺតក្រទមមានអំនួតចំពោះខ្លួនឯង ហ៊ានពោលពាក្យអគតិនិងប្រព្រឹត្តអំពើល្មើសបំពានយ៉ាងធំធេងជាទីបំផុត»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ وَمَآ أَرۡسَلۡنَا مِن قَبۡلِكَ إِلَّا رِجَالٗا نُّوحِيٓ إِلَيۡهِمۡ ﴾ سورة النحل: ٤٣

មានន័យថា : « *យើងពុំបានបញ្ជូនអ្នកនាំសារណាម្នាក់មុនឯង លើកលែងតែជាអ្នកនាំសារប្រុស ដែលយើងត្រាស់បន្ទូលទៅកាន់ពួកគេ»។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ وَمَآ أَرۡسَلۡنَا مِن رَّسُولٍ إِلَّا بِلِسَانِ قَوۡمِهِۦ لِيُبَيِّنَ لَهُمۡ ﴾ سورة إبراهيم: ٤

មានន័យថា : *«នៃមូហាំម៉ាត់! យើងពុំបានបញ្ជូនអ្នកនាំសារណាម្នាក់មុនឯង លើកលែងតែជាអ្នកនាំសារដែលនិយាយភាសាជនជាតិនោះ ដើម្បីឱ្យគេពន្យល់បកស្រាយប្រាប់ពួកគេ»។*

ពួកណាពី និងពួកអ្នកនាំសារទាំងនោះប្រកបដោយបញ្ញាញាណពេញលេញ មាននិស្ស័យល្អត្រឹមត្រូវ ស្មោះត្រង់ទាំងពាក្យសម្តី និងកាយវិការ មានទំនុកចិត្តក្នុងការផ្សព្វផ្សាយពីអ្វីដែលគេបានបង្គាប់ប្រើដល់ពួកគេ។ ម៉្យាងទៀត ពួកគេស្អាតស្អំពីភាពខ្វះចន្លោះដែលនាំឱ្យខូចឈ្មោះដល់ ជីវប្រវត្តិរបស់ពួកគេ។ រូបសម្បត្តិល្អពេញលក្ខណៈគ្មានអ្វីគួរឱ្យទាស់ភ្នែកអ្នកមើល ហើយគ្មានអ្វីដែលនាំឱ្យអារម្មណ៍បរិសុទ្ធទាំងឡាយស្អប់ខ្ពើមចំពោះពួកគេនោះឡើយ។ អល់ឡោះជាម្ចាស់បានលើកតម្កើង កោតសរសើរចំពោះចិត្តគំនិត និងអាកប្បកិរិយារបស់ពួកគេ។ ពួកគេជាមនុស្សដែលមានរូបសម្បត្តិល្អគ្រប់លក្ខណៈ មានចិត្តនិងកេរ្តិ៍ឈ្មោះស្អាតស្អំបំផុត។ អល់ឡោះជាម្ចាស់ទ្រង់បានប្រទានដល់ពួកគេនូវសីលធម៌ល្អគ្រប់លក្ខណៈ អាកប្បកិរិយាល្អឧត្តុង្គឧត្តម។ លើសពីនេះ អល់ឡោះជាម្ចាស់ទ្រង់បានប្រទានដល់ពួកគេនូវទឹកចិត្តអត់ធ្មត់ ចំណេះដឹង អាកប្បកិរិយាមេត្តាករុណា ចិត្តសប្បុរស ដៃទូលាយ

ក្លាហាន និងយុត្តិធម៌...ដើម្បីឱ្យពួកគេមានសីលធម៌ល្អមានលក្ខណៈពិសេសខុសពីមនុស្សដទៃក្នុងចំណោមជាតិសាសន៍របស់ពួកគេ។ ដូចពួកសាសន៍របស់សឡេះ បាននិយាយទៅកាន់សឡេះ ក្នុងបន្ទូលរបស់អល់ឡោះជាម្ចាស់លើកឡើងថា :

﴿ قَالُواْ يَٰصَٰلِحُ قَدۡ كُنتَ فِينَا مَرۡجُوّٗا قَبۡلَ هَٰذَآۖ أَتَنۡهَىٰنَآ أَن نَّعۡبُدَ مَا يَعۡبُدُ ءَابَآؤُنَا ﴾ سورة هود: ٦٢

មានន័យថា : *«ពួកសាមូតបាននិយាយទៅកាន់ណាពីរបស់ពួកគេឈ្មោះសឡេះថា ពិតណាស់ ឯងពីមុនជាមនុស្សដែលយើងសង្ឃឹមថានឹងក្លាយជាមេដឹកនាំពួកយើងមុននឹងឯងនិយាយពាក្យនេះមកកាន់ពួកយើងទាំងអស់គ្នា។ តើឯងហាមឃាត់យើងមិនឱ្យគោរពបូជាពួកព្រះដែលជីដូនជីតាយើងធ្លាប់គោរពបូជាឬ?»*។

សាសន៍របស់ស៊ូអែបបាននិយាយទៅកាន់គាត់ថា :

﴿ قَالُواْ يَٰشُعَيۡبُ أَصَلَوٰتُكَ تَأۡمُرُكَ أَن نَّتۡرُكَ مَا يَعۡبُدُ ءَابَآؤُنَآ أَوۡ أَن نَّفۡعَلَ فِيٓ أَمۡوَٰلِنَا مَا نَشَٰٓؤُاْۖ إِنَّكَ لَأَنتَ ٱلۡحَلِيمُ ٱلرَّشِيدُ ٨٧ ﴾ سورة هود: ٨٧

មានន័យថា : *«សាសន៍របស់ស៊ូអែបបាននិយាយថា :«នែស៊ូអែប! តើការថ្វាយបង្គំរបស់អ្នកឬដែលប្រើអ្នកឱ្យបោះបង់ពួកព្រះដែលជីដូនជីតារបស់យើងគោរពបូជាឬក៏ចង់ឱ្យយើងឈប់រកស៊ីបោកប្រាស់? ពួកគេនិយាយចំអកប្រមាថថា ឯងពិតជាមនុស្សដែលមានស្មារតីអត់ធ្មត់ និងមានការយល់ឃើញត្រឹមត្រូវមែន»*។

អ្នកនាំសារមូហាំម៉ាត់ល្បីសុសសាយក្នុងសង្គមអារ៉ាប់ ដោយសារភាពស្មោះត្រង់របស់គាត់មុននឹងគាត់ទទួលសារអំពីអល់ឡោះជាម្ចាស់។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលរៀបរាប់ពីលក្ខណៈសម្បត្តិរបស់ មូហាំម៉ាត់ថា ៖

﴿ وَإِنَّكَ لَعَلَىٰ خُلُقٍ عَظِيمٍ ﴿٤﴾ ﴾ سورة القلم: ٤

មានន័យថា ៖ *«មូហាំម៉ាត់! ពិតណាស់ ឯងកំពុងឋិតនៅលើក្រមសីលធម៌ដ៏ឧត្តុង្គឧត្តម»។*

ណាពីនិងអ្នកនាំសារ គឺជាពួកមនុស្សដែលអល់ឡោះជាម្ចាស់បានជ្រើសរើសមកពីក្នុងចំណោមមនុស្សលោកទូទៅ។ ទ្រង់បានជ្រើសរើសពួកគេ ដើម្បីទទួលសារនិងផ្សព្វផ្សាយបញ្ញើរបស់អល់ឡោះ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ ٱللَّهُ أَعْلَمُ حَيْثُ يَجْعَلُ رِسَالَتَهُۥ ﴾ سورة الأنعام: ١٢٤

មានន័យថា ៖ *«អល់ឡោះជាម្ចាស់ដឹងច្បាស់អំពីទីណាដែលនឹងត្រូវដាក់សាររបស់ព្រះអង្គ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា ៖

﴿ إِنَّ ٱللَّهَ ٱصْطَفَىٰٓ ءَادَمَ وَنُوحًا وَءَالَ إِبْرَٰهِيمَ وَءَالَ عِمْرَٰنَ عَلَى ٱلْعَٰلَمِينَ ﴿٣٣﴾ ﴾ سورة آل عمران: ٣٣

មានន័យថា ៖ *«ពិតណាស់អល់ឡោះជាម្ចាស់បានជ្រើសរើសអាដាំ ណួស៏ និងក្រុមគ្រួសារអ៊ីព្រហ៊ីម ក្រុមគ្រួសារអ៊ិមរ៉ន ហើយទ្រង់បានលើកតម្កើងពួកគេឱ្យប្រសើរលើសពីមនុស្សលោកទាំងឡាយនាសម័យនោះ»។*

ពួកអ្នកនាំសារ និងពួកណាពីទាំងនោះមានលក្ខណៈសម្បត្តិខ្ពង់ខ្ពស់ ដូចដែលទ្រង់បានមានព្រះបន្ទូលប្រាប់ពិតមែន ត្បិតតែកេរ្តិ៍ឈ្មោះរបស់ពួកគេល្បីរន្ទឺ ដោយលក្ខណៈសម្បត្តិដ៏ប្រពៃរបស់ពួកគេ។

ក៏ប៉ុន្តែ ពួកគេជាមនុស្សធម្មតាទទួលរងនូវអ្វីដែលមនុស្សទូទៅទទួលរងក្នុងជីវិតរស់នៅ។ ពួកគេខ្លះត្រូវគេបោកប្រាស់ កើតជំងឺឈឺថ្កាត់ ត្រូវការដេក ត្រូវការទទួលទានអាហារ ត្រូវការរៀបការ មានប្រពន្ធកូន ហើយចុងក្រោយនឹងត្រូវស្លាប់ដូចមនុស្សទូទៅដែរ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ إِنَّكَ مَيِّتٌ وَإِنَّهُم مَّيِّتُونَ ﴿٣٠﴾ ﴾ سورة الزمر: ٣٠

មានន័យថា : «*ពិតណាស់ មូហាំម៉ាត់ឯងត្រូវស្លាប់ ហើយពួកគេក៏ត្រូវស្លាប់ដែរ*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ وَلَقَدْ أَرْسَلْنَا رُسُلًا مِّن قَبْلِكَ وَجَعَلْنَا لَهُمْ أَزْوَاجًا وَذُرِّيَّةً ﴾ سورة الرعد: ٣٨

មានន័យថា : «*ពិតណាស់ យើងបានបញ្ជូនពួកអ្នកនាំសារមកមុនឯង ហើយយើងធ្វើឱ្យពួកគេមានប្រពន្ធនិងកូនចៅ*»។

មិនតែប៉ុណ្ណោះ ពួកអ្នកនាំសារទាំងនោះអាចប្រឈមនឹងការជិះជាន់ធ្វើបាបដោយប្រការផ្សេងៗ អយុត្តិធម៌ ឬត្រូវគេសម្លាប់ ឬត្រូវជម្លៀសចេញពីភូមិស្រុក។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَإِذْ يَمْكُرُ بِكَ الَّذِينَ كَفَرُوا لِيُثْبِتُوكَ أَوْ يَقْتُلُوكَ أَوْ يُخْرِجُوكَ وَيَمْكُرُونَ وَيَمْكُرُ اللَّهُ وَاللَّهُ خَيْرُ الْمَاكِرِينَ ﴿٣٠﴾ ﴾ سورة الأنفال: ٣٠

មានន័យថា : «*នែមូហាំម៉ាត់! ចូរអ្នករំឭកមើលខណៈដែលពួកអ្នកគោរពពហុទេពនៃសាសន៍របស់ឯងបានប្រើឧបាយកលចង់ចាប់ចងឯងឬចង់សម្លាប់ឯង ឬចង់ជម្លៀសឯងចេញពីស្រុក ពួកគេប្រើឧបាយកលដាក់ឯង។ តែអល់ឡោះជាម្ចាស់ទ្រង់បង្វិលឧបាយកលនេះ ត្រលប់*

*ទៅវកពួកគេវិញ ជាផលកម្មរបស់ពួកគេ។ អល់ឡោះជាម្ចាស់ទ្រង់ក៏មានឧបាយកលរបស់ទ្រង់ ហើយទ្រង់ជាអ្នកមានឧបាយកលដ៏មានប្រសិទ្ធិភាពជាទីបំផុត»។*

ក៏ប៉ុន្តែ ទោះជាយ៉ាងណាក៏ដោយលទ្ធផលចុងក្រោយ ភាពជោគជ័យ និងការមានអំណាចរឹងមាំ គឺសម្រាប់ពួកអ្នកនាំសារទាំងនោះទាំងក្នុងលោកីយ៍និងបរលោក។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَلَيَنصُرَنَّ ٱللَّهُ مَن يَنصُرُهُۥٓ ﴾ سورة الحج: ٤٠

មានន័យថា : *«ពិតណាស់ អល់ឡោះទ្រង់នឹងជួយឱ្យមានជ័យជំនះចំពោះអ្នកណាដែលជួយគាំទ្រព្រះអង្គ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ كَتَبَ ٱللَّهُ لَأَغْلِبَنَّ أَنَا۠ وَرُسُلِيٓۚ إِنَّ ٱللَّهَ قَوِيٌّ عَزِيزٌ ٢١ ﴾ سورة المجادلة: ٢١

មានន័យថា : *«អល់ឡោះជាម្ចាស់បានចារក្នុងព្រះលិខិតរួចជាស្រេចថា ជ័យជំនះគឺសម្រាប់ព្រះអង្គ គម្ពីររបស់ទ្រង់ ពួកអ្នកនាំសាររបស់ទ្រង់ និងបម្រើទាំងឡាយរបស់ទ្រង់ដែលមានជំនឿ។ ពិតណាស់ អល់ឡោះទ្រង់មានអំណាចខ្លាំងក្លា គ្មានអ្វីអាចរារាំងទ្រង់បានឡើយ ហើយទ្រង់មានតេជានុភាពលើសត្វលោកទាំងមូល»។*

## សញ្ញាភស្តុតាងបញ្ជាក់ពីភាពក្លាយជាណាពី

ពិតណាស់ ភាពក្លាយជាណាពី គឺជាមធ្យោបាយមួយដើម្បីស្គាល់នូវចំណេះដឹងដ៏ឧត្តុង្គឧត្តម និងការប្រណិប័តន៍ដ៏ថ្លៃថ្លាឧត្តុង្គឧត្តម។ ក្តីមេត្តារបស់អល់ឡោះជាម្ចាស់ គឺទ្រង់បានបង្កើតសម្រាប់ពួកណាពីទាំងនោះនូវសញ្ញាភស្តុតាងនានាបញ្ជាក់ពីសច្ចភាពរបស់ពួកគេ និងជាអំណះអំណាងសម្រាប់មនុស្សទាំងឡាយយកធ្វើជាភស្តុតាងបញ្ជាក់ពីសច្ចភាពរបស់ពួកគេផងដែរ។ ម៉្យាងទៀត ពួកគេអាចស្គាល់ពួកណាពីទាំងនោះ តាមរយៈភស្តុតាងផ្សេងៗ។ បើមាននរណាម្នាក់អះអាងថា ខ្លួនជាណាពី គឺត្រូវមានភស្តុតាង និងទិដ្ឋភាពដែលបញ្ជាក់ពីសច្ចភាពរបស់គេជាណាពីពិត។ ភស្តុតាងទាំងនោះក៏អាចបកអាក្រាតពីការកុហកបោកប្រាស់របស់គេ បើសិនគេជាបុគ្គលបោកប្រាស់។ សញ្ញាភស្តុតាងទាំងនេះមានច្រើន ហើយសញ្ញាភស្តុតាងសំខាន់ៗមានដូចតទៅៈ



១. អ្នកនាំសារនោះ គឺអំពាវនាវមនុស្សទៅរកការគោរពប្រណិប័តន៍ចំពោះអល់ឡោះជាម្ចាស់តែមួយគត់ ហើយបោះបង់ចោលនូវរាល់ការគោរពបូជាអ្វីផ្សេងក្រៅពីទ្រង់ ពីព្រោះនេះគឺជាគោលបំណងដែលអល់ឡោះជាម្ចាស់ទ្រង់បានបង្កើតសត្វលោកមកក្នុងលោកិយ៍នេះ។

២. អំពាវនាវមនុស្សឱ្យមានជំនឿចំពោះអល់ឡោះ ស្មោះត្រង់ចំពោះទ្រង់ និងប្រតិបត្តិតាមសាររបស់ព្រះអង្គ។ អល់ឡោះជាម្ចាស់ទ្រង់បានបង្គាប់ចំពោះអ្នកនាំសាររបស់ទ្រង់(អ្នកនាំសារ មូហាំម៉ាត់) ឱ្យអំពាវនាវថា :

﴿ قُلْ يَٰٓأَيُّهَا ٱلنَّاسُ إِنِّى رَسُولُ ٱللَّهِ إِلَيْكُمْ جَمِيعًا ﴾ سورة الأعراف: ١٥٨

មានន័យថា ៖«*មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា នែមនុស្សលោកទាំងឡាយ ពិតណាស់ខ្ញុំគឺជាអ្នកនាំសាររបស់អល់ឡោះ មកកាន់ពួកអ្នកទាំងអស់គ្នា*»។

៣. ចាំបាច់ត្រូវមានការគាំទ្រពីអល់ឡោះជាម្ចាស់ដោយសញ្ញាភស្តុតាងផ្សេងៗបញ្ជាក់ពីភាពក្លាយជាណាពីរបស់ពួកគេ។ សញ្ញាភស្តុតាងដែលណាពីទាំងនោះបាននាំមក គឺសាសន៍របស់គេមិនអាចបដិសេធ ឬចាត់ទុកជាមោឃៈ ហើយមិនអាចធ្វើបានដូចជាដាច់ខាត។ ក្នុងនោះមានសញ្ញាភស្តុតាងរបស់មូសា នៅពេលដែលឈើច្រត់របស់គាត់ប្រែក្រឡាទៅជាពស់។ សញ្ញាភស្តុតាងរបស់អ៊ីសា(យេស៊ូ) ខណៈដែលគាត់បានព្យាបាលអ្នកខ្វាក់ភ្នែកពីកំណើតឱ្យជា ហើយព្យាបាលមនុស្សកើតឃ្លង់ឱ្យជាសះដោយការអនុញ្ញាតអំពីអល់ឡោះជាម្ចាស់។ សញ្ញាភស្តុតាងរបស់មូហាំម៉ាត់គឺគម្ពីរអាល់គួរអានដ៏ឧត្តម។ ថ្វីបើគាត់ជាមនុស្សអនក្ខរជន មិនចេះអាន មិនចេះសរសេរ គាត់បាននាំមកនូវគម្ពីរដ៏អស្ចារ្យ និងនៅមានសញ្ញាភស្តុតាងផ្សេងៗទៀត។

អំពីភស្តុតាងទាំងនោះដែរ គឺសច្ចភាពដ៏ច្បាស់លាស់ដែលពួកណាពីនិងពួកអ្នកនាំសារបាននាំមក។ម្យ៉ាងទៀតដៃគូវិវាទរបស់ពួកគេមិនច្រានចោល ហើយក៏មិនអាចបដិសេធផងដែរ។ មិនតែប៉ុណ្ណោះដៃគូវិវាទទាំងនោះដឹងយ៉ាងច្បាស់ថាអ្វីដែលពួកណាពីនាំមកគឺជាសច្ចភាពដែល មិនអាចប្រកែកបាន។

អំពីភស្តុតាងដែលអល់ឡោះជាម្ចាស់បានប្រទានមក ជាពិសេសដល់ពួកណាពី គឺមានជីវប្រវត្តិល្អត្រឹមត្រូវ មានចរិតលក្ខណៈពេញ

លេញ មានអាកប្បកិរិយាល្អ និងសីលធមិថ្លៃថ្នូរ។ ជាសញ្ញាភស្តុតាងផង ដែរ គឺការគាំទ្ររបស់អល់ឡោះជាម្ចាស់ដល់ពួកគេឱ្យមានជ័យជម្នះ លើដៃគូវិវាទ ហើយអ្វីដែលពួកគេបានផ្សព្វផ្សាយគឺទទួលបានជោគជ័យ។

៤.ឫសគល់នៃការអំពាវនាវរបស់គេចាំបាច់ត្រូវឯកភាពនឹងឫសគល់ដែលពួកអ្នកនាំសារនិងពួកណាពីជំនាន់មុនៗបានអំពាវនាវ។

៥. មិនអំពាវនាវមនុស្សឱ្យគោរពបូជាខ្លួនឯងឬប្រតិបត្តិអ្វីមួយ ដែលជាការគោរពប្រតិបត្តិនិងឧទ្ទិសដល់ខ្លួនឯង។ ម៉្យាងទៀត មិនអំពាវនាវគេឱ្យលើកតម្កើងកុលសម្ព័ន្ធ ឬក្រុមរបស់ខ្លួន។ អល់ឡោះជាម្ចាស់ ទ្រង់បានបញ្ជាចំពោះអ្នកនាំសារមូហាំម៉ាត់ ឱ្យមានប្រសាសន៍ទៅកាន់មនុស្សទូទៅ ដូចទ្រង់មានក្នុងព្រះបន្ទូលរបស់ទ្រង់ថា :

﴿ قُل لَّآ أَقُولُ لَكُمۡ عِندِي خَزَآئِنُ ٱللَّهِ وَلَآ أَعۡلَمُ ٱلۡغَيۡبَ وَلَآ أَقُولُ لَكُمۡ إِنِّي مَلَكٌۖ إِنۡ أَتَّبِعُ إِلَّا مَا يُوحَىٰٓ إِلَيَّۚ ﴾ سورة الأنعام: ٥٠

មានន័យថា : «*នែអ្នកនាំសាររបស់អល់ឡោះ! ចូរមានប្រសាសន៍ទៅកាន់ពួកអ្នកគោរពពហុទេពទាំងនោះថា :«ខ្ញុំមិនបានអះអាងថា ខ្លួនខ្ញុំកាន់កាប់ឃ្លាំងទ្រព្យសម្បត្តិនៅលើមេឃនិងលើផែនដី ហើយខ្ញុំនឹងចែកចាយសម្បត្តិទាំងនោះទេ។ ខ្ញុំក៏មិនបានអះអាងថា ខ្លួនខ្ញុំដឹងរឿងអាថ៌កំបាំង។ ខ្ញុំក៏មិនបានអះអាងថាខ្លួនខ្ញុំជាទេវតានោះដែរ។តាមពិតខ្ញុំគ្រាន់តែជាអ្នកនាំសារមកអំពីអល់ឡោះ ជាម្ចាស់តែប៉ុណ្ណោះ។ ខ្ញុំមិនធ្វើអ្វីក្រៅពីការប្រតិបត្តិអ្វីដែលអល់ឡោះបានត្រាស់បន្ទូលមកចំពោះខ្ញុំនោះឡើយ*»។

៦. មិនទាមទារចង់បានលាភសក្ការៈពីមនុស្សលោក តបស្នង ចំពោះការអំពាវរបស់គេនោះទេ។ អល់ឡោះជាម្ចាស់បានបន្ទូលប្រាប់ ពីពួកណាពីរបស់ទ្រង់ ណួស លូត ស៊ូអែបដែលពួកគេបានមាន ប្រសាសន៍ថា ៖

﴿ وَمَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍۖ إِنۡ أَجۡرِيَ إِلَّا عَلَىٰ رَبِّ ٱلۡعَٰلَمِينَ ﴿١٠٩﴾ ﴾ سورة الشعراء: ١٠٩

មានន័យថា ៖*«ខ្ញុំមិនបានសុំថ្លៃឈ្នួលពីពួកអ្នកសម្រាប់ការអំពាវនាវនេះ ទេ។ថ្លៃតបស្នងរបស់ខ្ញុំគ្មានអ្វីក្រៅពីការតបស្នងផលបុណ្យរបស់អល់ ឡោះជាម្ចាស់នៃសកលលោកទាំងមូល»។*

មូហាំម៉ាត់ជាអ្នកនាំសារបានមានប្រសាសន៍ទៅកាន់សាសន៍របស់ គាត់ក្នុងព្រះបន្ទូលរបស់អល់ឡោះជាម្ចាស់ថា ៖

﴿ قُلۡ مَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍ وَمَآ أَنَا۠ مِنَ ٱلۡمُتَكَلِّفِينَ ﴿٨٦﴾ ﴾ سورة ص: ٨٦

មានន័យថា ៖ *«នែមូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ទៅកាន់ពួកអ្នក គោរពពហុទេពទាំងនោះថា ខ្ញុំមិនទាមទារថ្លៃឈ្នួល ឬការតបស្នងពី ពួកអ្នកសម្រាប់ការអំពាវនាវ និងការចង្អុលបង្ហាញផ្លូវដល់ពួកអ្នកនោះ ទេ។ ខ្ញុំពុំបានអះអាងនូវអ្វីដែលពុំមែនជារបស់ខ្ញុំ ហើយក៏ខ្ញុំមិនបាន ប្រឌិតឡើងដោយការកុហកបោកប្រាស់នោះដែរ»។*

ពួកអ្នកនាំសារ និងពួកណាពីដែលខ្ញុំបានលើកឡើងពីលក្ខណៈ សម្បត្តិ និងភស្តុតាងបញ្ជាក់ពីភាពក្លាយជាណាពីរបស់ពួកគេ គឺមាន ច្រើន។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ وَلَقَدۡ بَعَثۡنَا فِي كُلِّ أُمَّةٖ رَّسُولًا أَنِ ٱعۡبُدُواْ ٱللَّهَ وَٱجۡتَنِبُواْ ٱلطَّٰغُوتَ ﴾ سورة النحل: ٣٦

មានន័យថា : *«ប្រាកដណាស់ យើងបានបញ្ជូនមកកាន់គ្រប់ប្រជាជាតិនីមួយៗ នូវអ្នកនាំសារម្នាក់ ដើម្បីអំពាវនាវឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះនិងបោះបង់ការគោរពបូជាបិសាច ជំនឿអរូបី និងរូបសំណាកផ្សេងៗ»។*

មនុស្សជាតិពិតជាទទួលបាននូវសេចក្តីសុខសុភមង្គលដោយសារណាពីនិងអ្នកនាំសារ ហើយទំព័រប្រវត្តិសាស្រ្តបានកត់ត្រាពីដំណឹងរបស់ពួកគេ និងបានផ្ទេរបញ្ញត្តិច្បាប់សាសនារបស់ពួកគេពីជំនាន់មួយទៅជំនាន់មួយជាបន្តបន្ទាប់ ពីព្រោះនេះជាបញ្ញត្តិច្បាប់ដែលមានសច្ចភាព និងយុត្តិធម៌។ ម្យ៉ាងទៀតក៏មានការកត់ត្រាជាបន្តបន្ទាប់ដែរអំពីព្រឹត្តិការណ៍ទាំងឡាយដែលអល់ឡោះជាម្ចាស់បានប្រទានជ័យជំនះដល់ពួកគេ និងបានបំផ្លិចបំផ្លាញសត្រូវរបស់ពួកគេ ដូចជាទឹកជំនន់ជន់លិចមនុស្សសម័យណួស។ ការលង់ទឹករបស់ស្តេចផារ៉ាអុង ទារុណកម្មលើសាសន៍របស់ណាពីលូត៏ និងជ័យជំនះរបស់អ្នកនាំសារមូហាំម៉ាត់លើពួកសត្រូវរបស់គាត់ ហើយសាសនារបស់គាត់ក៏បានរីកសុសសាយ...។ ចំពោះអ្នកដែលដឹងពីដំណឹងទាំងនេះ អ្នកនោះនឹងស្គាល់ច្បាស់ថា ពួកគេនាំមកនូវសេចក្តីល្អចម្រុងចម្រើន និងការចង្អុលបង្ហាញទៅរកផ្លូវត្រូវ។ ម្យ៉ាងវិញទៀត តួនាទីរបស់គេ គឺការចង្អុលបង្ហាញមនុស្សទៅរកអ្វីដែលមានអត្ថប្រយោជន៍សម្រាប់ពួកគេ ដាស់តឿនពួកគេឱ្យមានបម្រុងប្រយ័ត្នអំពីអ្វីដែលមានគ្រោះថ្នាក់ វិនាសមហន្តរាយដល់ពួកគេ។ អ្នកនាំសារមុនដំបូងបង្អស់គឺណួស ហើយចុងក្រោយគេបង្អស់គឺអ្នកនាំសារមូហាំម៉ាត់។

## តម្រូវការរបស់មនុស្សចំពោះពួកអ្នកនាំសារ

ពួកណាពី គឺជាពួកអ្នកនាំសាររបស់អល់ឡោះទៅកាន់មនុស្សលោក ផ្សព្វផ្សាយប្រាប់ពួកគេនូវបទបញ្ជារបស់ទ្រង់ ហើយផ្តល់ដំណឹងល្អដល់ពួកគេអំពីអ្វីដែលអល់ឡោះជាម្ចាស់បានរៀបចំត្រៀមទុកសម្រាប់ពួកគេនូវបរមសុខក្នុងឋានសួគ៌ ប្រសិនបើពួកគេគោរពប្រតិបត្តិចំពោះទ្រង់។ លើសពីនេះបានដាស់តឿនឱ្យពួកគេប្រុងប្រយ័ត្នពីទារុណកម្មដ៏អមតៈរបស់ទ្រង់ បើសិនជាពួកគេនាំគ្នាប្រព្រឹត្តល្មើសនឹងបម្រាមរបស់ទ្រង់។ ពួកអ្នកនាំសារទាំងនោះនិទានប្រាប់ពួកគេពីដំណឹងពួកប្រជាជាតិសម័យមុន ប្រាប់ពីទារុណកម្ម ការបំផ្លិចបំផ្លាញដែលពួកគេបានទទួលរងដោយសារការជំទាស់និងការប្រព្រឹត្តល្មើសរបស់ពួកគេចំពោះបទបញ្ជារបស់ទ្រង់។

បទបញ្ជា និងបម្រាមទាំងនោះមកអំពីព្រះជាម្ចាស់។ ដោយសារបញ្ញារបស់មនុស្សយល់មិនដល់ ទើបអល់ឡោះជាម្ចាស់ទ្រង់បានបញ្ញត្តិច្បាប់ ដាក់កាតព្វកិច្ច និងបានហាមប្រាម ក្នុងបំណងដើម្បីលើកតម្កើងដល់មនុស្សជាតិ ផ្តល់កិត្តិយស និងតម្លៃដល់ពួកគេ ហើយរក្សាការពារផលប្រយោជន៍របស់ពួកគេ។ ពីព្រោះមនុស្សអាចរអិលធ្លាក់ក្នុងរណ្តៅនៃចំណង់តណ្ហា ហើយពួកគេប្រព្រឹត្តល្មើសបំពានលើបញ្ញត្តិច្បាប់ ជិះជាន់ធ្វើបាបមនុស្សដូចគ្នា និងរំលោភបំពានលើសិទ្ធិសេរីភាពរបស់ពួកគេ។ ដូច្នេះ យោងតាមគតិបណ្ឌិតដ៏ខ្ពង់ខ្ពស់របស់ទ្រង់ ទ្រង់បានបញ្ជូនពួកអ្នកនាំសារពីសម័យកាលមួយទៅសម័យកាលមួយ

ដើម្បីដាស់រំឭកមនុស្សលោកឱ្យភ្ញាក់រលឹកនឹកដល់បទបញ្ញារបស់អល់ឡោះ។ ម្យ៉ាងវិញទៀត បានដាស់តឿនឱ្យពួកគេប្រុងប្រយ័ត្នពីការធ្លាក់ខ្លួនទៅប្រព្រឹត្តបទល្មើសចំពោះទ្រង់។ ពួកអ្នកនាំសារទាំងនោះ អានឱ្យពួកគេស្តាប់នូវការទូន្មានប្រៀនប្រដៅ រំឭកពួកគេពីដំណឹងមនុស្សសម័យមុន។ ពិតណាស់ ដំណឹងចម្លែក កាលបើឮដល់ត្រចៀក ហើយអត្ថន័យប្លែក កាលបើជ្រាបដល់សតិអារម្មណ៍របស់ពួកគេ គឺធ្វើឱ្យបញ្ញារបស់ពួកគេកាន់តែយល់ដឹងខ្លាំងឡើង និងកាន់តែត្រឹមត្រូវ។ មនុស្សដែលស្តាប់បានច្រើនជាងគេនឹងទទួលបានគំនិតច្រើនជាងគេ។ អ្នកដែលមានគំនិតច្រើនជាងគេ នឹងចេះត្រិះរិះពិចារណាច្រើនជាងគេ។ អ្នកដែលត្រិះរិះពិចារណាច្រើនជាងគេ មានចំណេះដឹងច្រើនជាងគេ។ អ្នកដែលមានចំណេះដឹងច្រើនជាងគេ និងប្រតិបត្តិបានច្រើនជាងគេ។ គ្មានអ្វីមានតម្លៃស្មើនឹងការតែងតាំងពួកអ្នកនាំសារ ហើយក៏គ្មានសច្ចភាពណាដែលទៀងត្រង់ជាងសច្ចភាពដែលចេញពីពួកគេដែរ។

សាសនវិទូឥស្លាម លោកអិបនូតៃមីយ៉ះ បាននិយាយថា សារមកពីព្រះជាម្ចាស់គឺជាកត្តាចាំបាច់សម្រាប់សុចរិតភាពនៃការរស់នៅ និងការស្លាប់របស់មនុស្សលោក។ គ្មានសុចរិតភាពណាដែលល្អសម្រាប់ពួកគេទៅកាន់ថ្ងៃបរលោក ក្រៅពីការប្រតិបត្តិតាមសារនេះឡើយ។ ក៏ដូចគ្នាដែរ គ្មានសុចរិតភាពណាល្អសម្រាប់ការរស់នៅរបស់ពួកគេក្នុងលោកិយ៍ ក្រៅពីការប្រតិបត្តិតាមសារនេះ។ មនុស្សលោកចាំបាច់ត្រូវតែមានច្បាប់សាសនា ដើម្បីគ្រប់គ្រង ពីព្រោះរូបគេឋិតនៅចន្លោះនៃចលនាពីរគឺចលនាដែលនាំមកនូវផលប្រយោជន៍ និងចលនាដែលនាំ

មកនូវគ្រោះថ្នាក់។ ច្បាប់សាសនាគឺជាពន្លឺដែលស្រោយបំភ្លឺអំពីអ្វីដែលមានប្រយោជន៍និងអ្វីដែលគ្រោះថ្នាក់។ ច្បាប់សាសនាគឺជាពន្លឺរបស់អល់ឡោះនៅលើផែនដី ជាយុត្តិធម៌របស់ទ្រង់សម្រាប់មនុស្សលោក ហើយជាកំផែងរបស់ទ្រង់ដែលនរណាបានចូលទៅក្នុងហើយ អ្នកនោះនឹងទទួលបាននូវសេចក្តីសុខសុវត្ថិភាព។

ទាំងនេះពុំមែនសំដៅដល់ច្បាប់ ដែលបែងចែកស្គាល់អ្វីជាផលប្រយោជន៍ និងអ្វីជាគ្រោះថ្នាក់ដោយរូបីនោះទេ។ ពីព្រោះនេះគឺជាបាតុភូតដែលកើតមានចំពោះសត្វឃាត។ ពិតណាស់ សត្វលា និងសត្វអូដ្ឋចេះបែងចែកស្គាល់អ្វីជាស្រូវ និងអ្វីជាដី។ ក៏ប៉ុន្តែការបែងចែករវាងទង្វើដែលនាំឱ្យអ្នកប្រព្រឹត្តរងគ្រោះថ្នាក់សម្រាប់ការរស់នៅក្នុងពេលបច្ចុប្បន្ន និងការរស់ឡើងវិញនៅថ្ងៃបរលោក។ ទង្វើដែលនាំឱ្យមានផលប្រយោជន៍ដល់អ្នកប្រព្រឹត្តក្នុងការរស់នៅបច្ចុប្បន្ន និងការរស់ឡើងវិញនៅថ្ងៃបរលោក។ ដូចជាផលប្រយោជន៍នៃជំនឿ ការជឿលើព្រះតែមួយ យុត្តិធម៌ កតញ្ញូ កុសលធម៌ សេចក្តីស្មោះត្រង់ ភាពបរិសុទ្ធ សេចក្តីក្លាហាន ចំណេះដឹង ការអត់ធ្មត់ ការណែនាំគ្នាឱ្យប្រព្រឹត្តអំពើល្អ និងការហាមឃាត់គ្នាពីអំពើអាក្រក់ ការរាប់អានសាច់ញាតិ ការកតញ្ញូចំពោះឪពុកម្តាយ ធ្វើល្អចំពោះញាតិជិតខាង គោរពសិទ្ធិអ្នកដទៃ អនុវត្តដោយចិត្តជ្រះថ្លាចំពោះអល់ឡោះ ការពឹងពាក់ចំពោះទ្រង់ ការសុំជំនួយពីទ្រង់ សុខចិត្តទទួលវាសនាកំណត់របស់ទ្រង់ ស្តាប់តាមច្បាប់បង្គាប់របស់ទ្រង់ ជឿជាក់ចំពោះទ្រង់ ជឿជាក់ចំពោះពួកអ្នកនាំសាររបស់ទ្រង់ និងជឿជាក់ចំពោះអ្វីដែលពួកគេបានប្រាប់ ព្រមទាំងអ្វីៗ

ផ្សេងទៀតដែលមានប្រយោជន៍ និងមានសុចរិតភាពសម្រាប់មនុស្ស ទាំងក្នុងលោកីយ៍នេះ និងបរលោក។ ម៉្យាងទៀតរាល់អ្វីដែលផ្ទុយនឹងការរៀបរាប់ខាងលើសុទ្ធតែមានទំនោរទៅរកវាសនាអភ័ព្វ គ្រោះថ្នាក់ទាំងក្នុងលោកីយ៍ និងបរលោក។

បើសិនជាមិនមានសារអំពីព្រះទេ បញ្ញារបស់មនុស្សនឹងមិនស្គាល់ពិស្តារអំពីផលប្រយោជន៍ និងផលគ្រោះថ្នាក់ក្នុងជីវិតរស់នៅឡើយ។ ការប្រទាន និងពរជ័យដ៏ឧត្តុង្គឧត្តមរបស់ទ្រង់ចំពោះមនុស្សលោក គឺទ្រង់បានបញ្ជូនពួកអ្នកនាំសារមកកាន់ពួកគេ។ ទ្រង់បានប្រទានគម្ពីរជាច្រើនចុះមកកាន់មនុស្សលោក។ ទ្រង់បានបកស្រាយប្រាប់ពួកគេអំពីផ្លូវសច្ចភាព។ បើពុំនោះទេ ពួកគេនឹងធ្លាក់ខ្លួនក្នុងកម្រិតសត្វពាហនៈ ហើយការរស់នៅរបស់ពួកគេអាក្រក់ជាងស្ថានភាពរស់នៅរបស់សត្វពាហនៈទៅទៀត។ ចំពោះនរណាដែលទទួលយកសាសនារបស់អល់ឡោះ ហើយបានប្រកាន់ខ្ជាប់នឹងសារនេះ គឺគេជាមនុស្សដែលមានសំណាងល្អជាងគេ។ ឯចំណែកអ្នកដែលច្រានចោលមិនព្រមទទួលយកសារនេះ គឺគេនឹងក្លាយជាមនុស្សដែលមានសំណាងអាក្រក់ជាងគេជាទីបំផុត។ ពួកគេអភ័ព្វជាងសត្វឃាត គ្មានស្លាកស្នាមអ្វីបន្សល់ជាមតិកសម្រាប់អ្នកនៅលើភពផែនដីនេះ ក្រៅពីស្លាកស្នាមនៃសារដែលបានបន្សល់ទុកជាមួយពួកគេនោះទេ។ បើសិនជាកេរដំណែល និងការទូន្មានប្រៀនប្រដៅរបស់ពួកអ្នកនាំសារ ត្រូវគេលុបបំបាត់ចោល គឺអល់ឡោះជាម្ចាស់ទ្រង់នឹងបំផ្លាញលោកនេះជាមិនខាន។

តម្រូវការរបស់មនុស្សចំពោះពួកអ្នកនាំសារពុំមែនដូចជាតម្រូវការរបស់ពួកគេចំពោះព្រះអាទិត្យ ព្រះចន្ទ្រ ខ្យល់ ទឹកភ្លៀង ហើយមិនដូចតម្រូវការរបស់គេចំពោះជីវិតរស់នៅនោះដែរ។ មិនមែនដូចជាតម្រូវការភ្នែកចំពោះពន្លឺ រូបកាយចំពោះចំណីអាហារនោះឡើយ។ ក៏ប៉ុន្តែតម្រូវការនេះធំធេង និងខ្លាំងក្លាជាងអ្វីៗដែលគេគិតក្នុងចិត្តរបស់គេ។ ពួកអ្នកនាំសារជាទូតរវាងអល់ឡោះ និងមនុស្សលោក ក្នុងការបង្គាប់ប្រើ និងការហាមឃាត់។ ពួកគេជាទូតនាំសាររវាងព្រះអង្គនិងមនុស្សលោក។ អ្នកនាំសារចុងក្រោយបង្អស់ជាចៅហ្វាយ និងប្រសើរលើសពួកអ្នកនាំសារទាំងឡាយគឺអ្នកនាំសារមូហាំម៉ាត់(សូមសន្តិភាពកើតមានដល់ពួកគាត់ទាំងអស់គ្នា)។ អល់ឡោះជាម្ចាស់បញ្ជូនគាត់មកជាក្តីមេត្តាសម្រាប់សកលលោកទាំងមូល។ គាត់ជាភស្តុតាងសម្រាប់ពួកអ្នកដើរតាម ហើយក៏ជាភស្តុតាងចំពោះមនុស្សលោកទាំងមូលផងដែរ។ ទ្រង់បានបង្គាប់មនុស្សលោកទាំងអស់ឱ្យគោរពប្រតិបត្តិចំពោះគាត់ ស្រលាញ់គាត់ លើកតម្កើងគាត់ បំពេញកាតព្វកិច្ចជូនគាត់។ ទ្រង់ធ្វើកិច្ចសន្យាចំពោះមនុស្សលោក ឱ្យមានជំនឿចំពោះគាត់ ប្រតិបត្តិតាមគាត់ជាជាងការប្រតិបត្តិតាមពួកណាពី និងពួកអ្នកនាំសារផ្សេងទៀត។ ម្យ៉ាងវិញទៀត ទ្រង់បានបង្គាប់ដល់ពួកណាពី និងអ្នកនាំសារទាំងនោះ ឱ្យធ្វើកិច្ចសន្យាជាមួយពួកអ្នកតាមខ្លួននៃពួកអ្នកមានជំនឿឱ្យប្រតិបត្តិតាមអ្នកនាំសារមូហាំម៉ាត់។ អល់ឡោះជាម្ចាស់បានបញ្ជូនគាត់មកមុននឹងថ្ងៃបរលោកមកដល់ ដើម្បីផ្តល់ដំណឹងល្អ និងដំណឹងអាក្រក់ ហើយអំពាវនាវមនុស្សឱ្យមានជំនឿចំពោះអល់ឡោះដោយ

ការអនុញ្ញាតពីទ្រង់។ គាត់គឺជាប្រទីប និងជាពន្លឺបំភ្លឺផ្លូវសម្រាប់សត្វលោកទាំងមូល។ តាមរយៈគាត់អល់ឡោះជាម្ចាស់បានបញ្ចប់ការបញ្ជូនសារ ហើយតាមរយៈគាត់ផងដែរ ទ្រង់ប្រទានការចង្អុលបង្ហាញឱ្យចាកផុតពីការវង្វេង។ ទ្រង់ប្រទានចំណេះដឹងធ្វើឱ្យចាកផុតពីភាពអវិជ្ជា។ ភ្នែកដែលធ្លាប់តែខ្វាក់ក៏ប្រែជាភ្លឺស្វាង។ ត្រចៀកដែលធ្លាប់តែថ្លង់ប្រែជាស្តាប់ឮ។ ចិត្តមានមោហ៍បាំងប្រែជាមានសេចក្តីជ្រះថ្លា។ ភពផែនដីទាំងមូលភ្លឺត្រចះត្រចង់បន្ទាប់ពីបានទទួលរងនូវភាពងងឹតអន្ធការ។ ទ្រង់ធ្វើឱ្យដួងចិត្តទាំងឡាយ ដែលធ្លាប់តែបែកបាក់គ្នាឱ្យមករួមសាមគ្គីគ្នាឡើងវិញ។ សាសនាដែលធ្លាប់តែវៀចវេរ និងប្រាសចាកពីសុចរិតភាពបានវិលត្រលប់មករកសុចរិតភាពឡើងវិញ។ តាមរយៈគាត់ទ្រង់បានបង្ហាញទិសដៅច្បាស់លាស់។ ទ្រង់បានបើកដួងចិត្តរបស់គាត់ឱ្យទទួលបាននូវសេចក្តីរីករាយ ហើយទ្រង់បានកាត់បន្ថយនូវបន្ទុកដ៏ធ្ងន់ធ្ងរពីខ្លួនគាត់។ ទ្រង់បានលើកតម្កើងកេរ្តិ៍ឈ្មោះរបស់គាត់ ហើយទ្រង់បានធ្វើឱ្យអាប់ឱនចំពោះអ្នកដែលប្រឆាំងជំទាស់នឹងគាត់។ ទ្រង់បានបញ្ជូនគាត់មកក្នុងខណៈដែលខ្សែរយៈអ្នកនាំសារ និងព្រះគម្ពីរបានផុតរលត់ នៅពេលដែលគម្ពីរទាំងឡាយត្រូវទទួលរងនូវការកែប្រែផ្លាស់ប្តូរក្បួនច្បាប់សាសនា។ ច្បាប់សាសនាត្រូវបិតនៅក្រោមការគ្រប់គ្រងរបស់មនុស្សអគតិ ធ្វើតាមការនឹកឃើញរបស់ពួកគេ។ ពួកគេកាត់ក្តីឱ្យមនុស្សលោកជំនួសអល់ឡោះតាមសម្តី ដែលចេញពីមាត់ដ៏កំហូច និងទំនើងចិត្តរបស់ពួកគេ។ ដូច្នេះ តាមរយៈអ្នកនាំសារម្នាក់នេះទ្រង់បានប្រទានការចង្អុលបង្ហាញដល់មនុស្សលោក ហើយទ្រង់បាន

បញ្ជាក់ប្រាប់ពីផ្លូវត្រូវដែលពួកគេត្រូវតែប្រតិបត្តិ។ តាមរយៈគាត់ផង ដែរអល់ឡោះជាម្ចាស់បានសង្គ្រោះមនុស្សឱ្យចាកផុតពីភាពងងឹតអន្ធការឆ្ពោះទៅរកពន្លឺ។ តាមរយៈគាត់ដែរ ទ្រង់បានបែងចែករវាងមនុស្សល្អនិងមនុស្សអាក្រក់។ នរណាទទួលការចង្អុលបង្ហាញរបស់គាត់ អ្នកនោះនឹងទទួលបានមាគ៌ាពិតប្រាកដ។ រីឯអ្នកដែលងាកចេញពីផ្លូវរបស់គាត់ អ្នកនោះប្រាកដជាវង្វេង និងល្មើសចំពោះទ្រង់។ សូមសន្តិភាពកើតមានដល់គាត់ និងកើតមានដល់ពួកអ្នកនាំសារ និងពួកណាពីទាំងឡាយ។

## សេចក្តីសង្ខេបអំពីតម្រូវការរបស់មនុស្សចំពោះសាររបស់ព្រះ

១.ពិតណាស់មនុស្សលោក គឺជាសត្វលោកដែលមានម្ចាស់ ហើយគេចាំបាច់ត្រូវតែស្គាល់អ្នកបង្កើតរបស់ខ្លួន។ គេត្រូវដឹងថា តើអ្នកបង្កើតនោះចង់បានអ្វីពីគេ? ហេតុអ្វីព្រះបង្កើតរូបគេ? មនុស្សមិនអាចស្គាល់រឿងនេះដោយឯកឯង ហើយគ្មានមធ្យោបាយណាក្រៅពីស្គាល់ទ្រង់តាមរយៈការស្គាល់ពួកណាពី និងពួកអ្នកនាំសារ ការចង្អុលបង្ហាញ និងពន្លឺដែលត្រូវបាននាំមក។

២.ពិតណាស់ មនុស្សគេបង្កើតពីរូបកាយ និងព្រលឹង។ ចំណីរូបកាយគឺអាហារដែលគេអាចបរិភោគបាន ហើយចំណីវិញ្ញាណវិញ ព្រះជាម្ចាស់ដែលបានបង្កើតគឺជាអ្នកសម្រេចអាហាររបស់វា។ អាហាររបស់វាគឺសាសនាដែលត្រឹមត្រូវ និងការប្រតិបត្តិអំពើល្អ។ ពួកណាពី និងពួក

អ្នកនាំសារបាននាំមកនូវសាសនាដ៏ត្រឹមត្រូវ ហើយចង្អុលបង្ហាញមនុស្សឱ្យប្រតិបត្តិអំពើល្អ។

៣.ពិតណាស់ មនុស្សកាន់សាសនាតាំងពីកំណើត ហើយរូបគេចាំបាច់ត្រូវតែមានសាសនាដើម្បីប្រកាន់តាម។ សាសនាដែលគេប្រកាន់តាមនោះចាំបាច់ត្រូវតែត្រឹមត្រូវ។ គ្មានផ្លូវទៅរកសាសនាត្រឹមត្រូវក្រៅពីតាមរយៈការមានជំនឿចំពោះពួកណាពី ពួកអ្នកនាំសារ និងមានជំនឿចំពោះអ្វីដែលពួកគាត់បាននាំមក។

៤.មនុស្សលោកត្រូវការស្គាល់ផ្លូវដែលនាំគេឆ្ពោះទៅរកការសព្វព្រះទ័យរបស់អល់ឡោះ នៅក្នុងលោកនេះ ឆ្ពោះទៅកាន់ឋានសួគ៌ និងពរជ័យរបស់ទ្រង់នៅថ្ងៃបរលោក។ ផ្លូវទាំងនេះមិនមាននរណាអាចជួយចង្អុលបង្ហាញ និងនាំផ្លូវទៅដល់គោលដៅនោះទេ ក្រៅពីពួកណាពី និងពួកអ្នកនាំសាររបស់អល់ឡោះ។

៥.ពិតណាស់ ខ្លួនរបស់មនុស្សទន់ខ្សោយ ហើយគេកំពុងប្រឈមនឹងសត្រូវជាច្រើនដូចជា បិសាចពង្វក់គេ មិត្តភ័ក្តិអាក្រក់ដែលចង់អូសទាញគេនិងតណ្ហារបស់គេដែលជំរុញខ្លួនគេទៅរកអំពើអាក្រក់។ ដូច្នេះគេត្រូវការអ្វីមួយដើម្បីរក្សាខ្លួនគេឱ្យឃ្លាតឆ្ងាយពីឧបាយកលសត្រូវ។ មានតែពួកណាពី និងពួកអ្នកនាំសារទេដែលអាចចង្អុលបង្ហាញ និងបកស្រាយប្រាប់ពួកគេបានច្បាស់លាស់ទាក់ទងនឹងបញ្ហាទាំងនេះ។

៦.ពិតណាស់មនុស្សលោកមានគំនិតបែបអរិយធម៌តាំងពីកំណើត គឺចង់រស់នៅប្រមូលផ្តុំគ្នា។ ដូច្នេះចាំបាច់ត្រូវតែមានច្បាប់ដើម្បីឱ្យមនុស្សប្រកាន់នូវភាពយុត្តិធម៌ និងសច្ចធម៌។ បើពុំនោះទេ ជីវិតរស់នៅ

របស់ពួកគេ ប្រៀបបីដូចនឹងជីវិតព្រៃ។ ច្បាប់នេះការពារសិទ្ធិរបស់មនុស្សគ្រប់រូបដោយមិនជ្រុលពេក ហើយក៏មិនធ្វេសប្រហែសពេកដែរ។ គ្មាននរណាម្នាក់នាំមកនូវច្បាប់មួយ ដែលសុក្រឹតពេញលេញឡើយ លើកលែងតែពួកណាពី និងពួកអ្នកនាំសារតែប៉ុណ្ណោះ។

៧. គេត្រូវការស្គាល់នូវកត្តាដែលនាំឱ្យរូបគេទទួលបានសម្រេចនូវសេចក្ដីសុខស្កប់ស្កល់ និងសុភង្គល។ បង្ហាញផ្លូវឱ្យគេឆ្ពោះទៅកាន់ហេតុផលទាំងឡាយ ដែលនាំឱ្យគេទទួលបាននូវសុភមង្គលពិត ហើយនេះគឺជាអ្វីដែលពួកណាពី និងពួកអ្នកនាំសារបានចង្អុលបង្ហាញ។

បន្ទាប់ពីបានបកស្រាយពីតម្រូវការរបស់មនុស្សចំពោះពួកណាពី និងពួកអ្នកនាំសាររួចមក យើងគប្បីរំឭកអំពីការរស់ឡើងវិញនាថ្ងៃបរលោក ហើយបកស្រាយអំពីភស្តុតាងនិងអំណះ អំណាងដែលបញ្ជាក់ពីរឿងនេះ។

# ការរស់ឡើងវិញ

មនុស្សគ្រប់រូបដឹងច្បាស់ថា ខ្លួននឹងត្រូវស្លាប់ដាច់ខាត។ ប៉ុន្តែ តើគេមានវាសនាដូចម្តេចបន្ទាប់ពីស្លាប់? តើគេមានសំណាងល្អឬសំណាងអាក្រក់?

មនុស្សលោក និងប្រជាជាតិជាច្រើនមានជំនឿថា ពួកគេនឹងត្រូវគេបង្កើតឱ្យរស់ឡើងវិញ បន្ទាប់ពីស្លាប់។ ពួកគេត្រូវគេនាំទៅជំនុំជម្រះតាមអំពើល្អ ឬអាក្រក់របស់ពួកគេ។ លទ្ធផលនៃទង្វើល្អបានល្អ និងទង្វើអាក្រក់បានអាក្រក់។ បញ្ហារស់ឡើងវិញ និងការជំនុំជម្រះសុបញ្ញាជនទាំងឡាយទទួលស្គាល់ ហើយគាំទ្រដោយក្បួនច្បាប់របស់ព្រះជាម្ចាស់។ ជំនឿនេះត្រូវបានបង្កើតឡើងដោយផ្អែកលើមូលដ្ឋានគ្រឹះចំនួនបីដូចខាងក្រោម៖

១. ទទួលស្គាល់សុក្រឹតភាពនៃចំណេះដឹងរបស់ព្រះ។





២.ទទួលស្គាល់សុក្រឹតភាពនៃអានុភាពរបស់ព្រះ។

៣.ទទួលស្គាល់សុក្រឹតភាពនៃគតិបណ្ឌិតរបស់ព្រះ។

ពិតណាស់ មានអំណះអំណាងជាច្រើនតាមរយៈក្បួនតម្រា និងតាមរយៈទស្សនៈដែលបញ្ជាក់ពីរឿងនេះ។ អំណះអំណាងទាំងនោះមានដូចតទៅ៖

១.ការបង្កើតមេឃ និងបង្កើតដី គឺជាអំណះអំណាងបញ្ជាក់ពីការបង្កើតសាកសពឱ្យរស់ឡើងវិញ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَوَلَمۡ يَرَوۡاْ أَنَّ ٱللَّهَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَلَمۡ يَعۡيَ بِخَلۡقِهِنَّ بِقَٰدِرٍ عَلَىٰٓ أَن يُحۡـِۧيَ ٱلۡمَوۡتَىٰۚ بَلَىٰٓۚ إِنَّهُۥ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٣٣ ﴾ سورة الأحقاف: ٣٣

មានន័យថា : *«តើពួកគេឃើញទេថា អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ និងផែនដីដោយគ្មានគំរូពីមុនមក? ទ្រង់មានសមត្ថភាពបង្កើតវា។ ទ្រង់មានអានុភាពបង្កើតសាកសពដែលទ្រង់ធ្លាប់បង្កើតពួកគេលើកដំបូងនោះឱ្យរស់ឡើងវិញ។ ពិតណាស់ រឿងទាំងអស់នេះងាយស្រួលបំផុតចំពោះអល់ឡោះដែលគ្មានអ្វីធ្វើឱ្យទ្រង់អសមត្ថភាពនោះឡើយ។ ប្រាកដណាស់ ទ្រង់មានអានុភាពលើអ្វីគ្រប់យ៉ាង»*។

អល់ឡោះបានមានព្រះបន្ទូលទៀតថា :

﴿ أَوَلَيۡسَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ بِقَٰدِرٍ عَلَىٰٓ أَن يَخۡلُقَ مِثۡلَهُمۚ بَلَىٰ وَهُوَ ٱلۡخَلَّٰقُ ٱلۡعَلِيمُ ٨١ ﴾ سورة يس: ٨١

មានន័យថា :*«ព្រះជាម្ចាស់ដែលបានបង្កើតមេឃប្រាំពីរជាន់និងផែនដី និងអ្វីៗដែលឋិតនៅចន្លោះភពទាំងពីរ។ តើទ្រង់មិនអាចបង្កើតឱ្យដូចដែលទ្រង់បានបង្កើតពួកគេពីដំបូងទេឬ? ពិតណាស់ ទ្រង់មានអានុភាពអាចធ្វើបាន។ ទ្រង់ជាអ្នកបង្កើតសត្វលោកទាំងឡាយ។ ទ្រង់ដឹងច្បាស់ពីអ្វីដែលទ្រង់បាននិងកំពុងបង្កើត។ គ្មានអ្វីលាក់បាំងនឹងទ្រង់នោះឡើយ»*។

២. អានុភាពរបស់ទ្រង់ក្នុងការបង្កើតសត្វលោកដោយគ្មានគំរូពីមុនមកជាអំណះអំណាងបញ្ជាក់ពីអានុភាពរបស់ទ្រង់អាចបង្កើតសត្វ

លោកឱ្យរស់ឡើងវិញម្តងទៀត។ អ្នកដែលមានអានុភាពបង្កើត គឺមានអានុភាពអាចបង្កើតឡើងវិញបាន និងរឹតតែប្រសើរលើសដើម។ ទ្រង់បានមានព្រះបន្ទូលថា :

﴿وَهُوَ ٱلَّذِى يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ وَهُوَ أَهۡوَنُ عَلَيۡهِۚ وَلَهُ ٱلۡمَثَلُ ٱلۡأَعۡلَىٰ﴾ سورة الروم: ٢٧

មានន័យថា : *«អល់ឡោះជាម្ចាស់តែមួយគត់ ដែលទ្រង់បានចាប់ផ្តើមបង្កើតសត្វលោកពីមិនទាន់កើតឱ្យកើត។ បន្ទាប់មកទ្រង់បង្កើតសត្វលោកឱ្យរស់ឡើងវិញបន្ទាប់ពីស្លាប់។ ការបង្កើតសាកសពឱ្យរស់ឡើងវិញ ងាយស្រួលចំពោះអល់ឡោះជាងការចាប់ផ្តើមបង្កើត។ ការងារទាំងពីរសុទ្ធតែងាយស្រួលចំពោះទ្រង់។ ទ្រង់មានលក្ខណៈស្អាតស្អំចាកផុតពីការពិពណ៌នាទាំងឡាយ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿وَضَرَبَ لَنَا مَثَلٗا وَنَسِيَ خَلۡقَهُۥۖ قَالَ مَن يُحۡيِ ٱلۡعِظَٰمَ وَهِيَ رَمِيمٞ ٧٨ قُلۡ يُحۡيِيهَا ٱلَّذِيٓ أَنشَأَهَآ أَوَّلَ مَرَّةٖۖ وَهُوَ بِكُلِّ خَلۡقٍ عَلِيمٌ ٧٩﴾ سورة يس: ٧٨ - ٧٩

មានន័យថា : *«អ្នកដែលបដិសេធនឹងការរស់ឡើងវិញនោះ បានលើកឧទាហរណ៍ប្រដូចយើងនឹងឧទាហរណ៍ទាំងឡាយដែលមិនសក្តិសមចំពោះយើង គឺប្រដូចអានុភាពរបស់អល់ឡោះនឹងសមត្ថភាពរបស់សត្វលោក។ គេភ្លេចពីដើមកំណើតរបស់ខ្លួនឯង។ គេនិយាយថា តើអ្នកណាបង្កើតឆ្អឹងដែលរលេះរលួយនេះឱ្យរស់ឡើងវិញ? នែមូហាំម៉ាត់ ចូរអ្នកមានប្រសាសន៍ប្រាប់គេថា អ្នកដែលបង្កើតឱ្យរស់ឡើងវិញ គឺអ្នកដែលបានបង្កើតវាពីដំបូងនោះឯង។ ទ្រង់ដឹងច្បាស់រាល់សត្វលោកនីមួយៗរបស់ទ្រង់។ គ្មានអ្វីលាក់បាំងនឹងទ្រង់ឡើយ»។*

៣. ទ្រង់បានបង្កើតមនុស្សឱ្យមានរូបសម្បត្តិដ៏ល្អពេញលក្ខណៈ និងសុក្រឹតបំផុតទាំងរូបរាងកាយ អវយវៈ ខ្លួនប្រាណ កម្លាំងពលំ លក្ខណៈសម្បត្តិ និងអ្វីៗដែលផ្គុំជារូបកាយមានដូចជា សាច់ ឆ្អឹងសរសៃ សាច់ដុំ រន្ធទាំងឡាយ ប្រជុំអាការៈរាងកាយ ចំណេះដឹង អារម្មណ៍ មនោសញ្ចេតនា បំណងប្រាថ្នា និងបំណិនទាំងឡាយ។ ទាំងនេះគឺជាអំណះអំណាងដ៏ធំបំផុតបញ្ជាក់ពីអានុភាពរបស់អល់ឡោះជាម្ចាស់ក្នុងការបង្កើតសាកសពឱ្យរស់ឡើងវិញ។

៤. ការបង្កើតឱ្យរស់ឡើងវិញក្នុងលោកនេះ ជាអំណះអំណាងបញ្ជាក់ពីអានុភាពរបស់ទ្រង់ក្នុងការបង្កើតសាកសពឱ្យរស់ឡើងវិញនៅថ្ងៃបរលោក។ នៅក្នុងគម្ពីរសម័យមុនដែលព្រះបានប្រទានចុះមកពួកអ្នកនាំសាររបស់ទ្រង់បាននិយាយអំពីការបង្កើតសាកសពឱ្យរស់ឡើងវិញដោយការអនុញ្ញាតអំពីអល់ឡោះ តាមរយៈអ៊ីព្រហ៊ីម យេស៊ូ និងអ្នកដទៃទៀត។

៥. អានុភាពរបស់ទ្រង់ចំពោះករណីមួយចំនួន ដែលស្រដៀងនឹងការបង្កើតឱ្យរស់ឡើងវិញ ដែលជាអំណះអំណាងបញ្ជាក់ពីអានុភាពរបស់ទ្រង់ ក្នុងការបង្កើតសាកសពឱ្យរស់ឡើងវិញដូចជា :

ក.អល់ឡោះបានបង្កើតមនុស្សពីតំណក់ទឹកកាមផលិតចេញពីខ្លួនប្រាណរបស់មនុស្ស។ ដូច្នេះ ខ្លួនប្រាណទាំងមូលស្រណុកសុខស្រួលនៅពេលរួមដំណេកបានសម្រេច។ អល់ឡោះជាម្ចាស់ប្រមូលតំណក់ទឹកកាមនេះពីគ្រប់ផ្នែកទាំងអស់នៃខ្លួនប្រាណ។ បន្ទាប់មកដាក់ប្រមូលផ្តុំគ្នានៅក្នុងស្បូន។ បន្ទាប់មកទៀត អល់ឡោះបង្កើតមនុស្សពីតំណក់ទឹក

កាមនោះ។ បើសិនជាផ្នែកផ្សេងៗដែលនៅជ្រាបសព្វពេញប្រាណនេះ ទ្រង់ប្រមូលផ្តុំដាក់មួយកន្លែង ហើយបង្កើតបានជាមនុស្សម្នាក់។ ហេតុអ្វីនិយាយថា ខ្លួនប្រាណមនុស្សដែលរលួយបែកខ្ទេកអស់ ទ្រង់មិនអាចប្រមូលឡើងវិញបាន? អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَفَرَءَيْتُم مَّا تُمْنُونَ ﴿٥٨﴾ ءَأَنتُمْ تَخْلُقُونَهُۥٓ أَمْ نَحْنُ ٱلْخَٰلِقُونَ ﴿٥٩﴾ ﴾ سورة الواقعة: ٥٨ - ٥٩

មានន័យថា : *«តើអ្នកឃើញទេ ទឹកកាមដែលចេញពីក្នុងខ្លួនរបស់ពួកអ្នកចូលទៅក្នុងស្បូនប្រពន្ធរបស់ពួកអ្នក? តើពួកអ្នកបង្កើតមនុស្សពីទឹកកាមនោះឬយើង(អល់ឡោះ)ជាអ្នកបង្កើត?»*។

ខ.គ្រាប់ធញ្ញជាតិគ្រប់ប្រភេទដែលមានទ្រង់ទ្រាយខុសៗគ្នា បើកាលណាគេយកទៅកប់ដាំក្នុងដីសើម បន្ទាប់មកវាប៉ះទឹកនិងប៉ះដី។ តាមបញ្ញាយើងគិតថា វាគួរណាស់តែស្អុយរលួយ។ ធាតុទាំងពីរ បើប៉ះត្រូវធាតុណាមួយ ក៏វាសមល្មមនឹងខូចស្អុយរលួយដែរ។ យ៉ាងណាមិញធាតុទាំងពីរផ្សំចូលគ្នាវារឹតតែខ្លាំងជាងនោះទៅទៀត។

ផ្ទុយទៅវិញវាបែរជាមិនស្អុយរលួយ ហើយរក្សានៅដដែល។ បើសិនជាមានជាតិសំណើមកើនឡើង គ្រាប់ធញ្ញជាតិនោះនឹងចាប់ផ្តើមប្រេះសម្បក ហើយមានបណ្តូលរុក្ខជាតិដុះឡើង។ តើនេះមិនបញ្ជាក់ពីអានុភាពពេញលេញ និងជាគតិបណ្ឌិតដ៏សុក្រឹតទេឬ? នេះជាអានុភាពរបស់ព្រះជាម្ចាស់ប្រកបដោយគតិបណ្ឌិត។ តើទ្រង់មិនអាចប្រមូលធាតុទាំងឡាយ និងផ្តុំអវយវៈទាំងនេះឡើងវិញទេឬ? អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَفَرَءَيْتُم مَّا تَحْرُثُونَ ﴿٦٣﴾ ءَأَنتُمْ تَزْرَعُونَهُۥٓ أَمْ نَحْنُ ٱلزَّٰرِعُونَ ﴿٦٤﴾ ﴾ سورة الواقعة: ٦٣ - ٦٤

មានន័យថា :«*តើពួកអ្នកឃើញទេដំណាំដែលពួកអ្នកដាំ? តើពួកអ្នកជាអ្នកបណ្ដុះវាចេញមកមែនទេ? ពិតណាស់យើងទេដែលជាអ្នកបណ្ដុះវាឱ្យចាក់ឫសជាប់ក្នុងដី ហើយមានពន្លកដុះចេញមកក្រៅ*»។

មានន័យស្រដៀងគ្នានឹងខ្លឹមសារនេះ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَتَرَى ٱلۡأَرۡضَ هَامِدَةٗ فَإِذَآ أَنزَلۡنَا عَلَيۡهَا ٱلۡمَآءَ ٱهۡتَزَّتۡ وَرَبَتۡ وَأَنۢبَتَتۡ مِن كُلِّ زَوۡجِۭ بَهِيجٖ ۝٥ ﴾ سورة الحج: ٥

មានន័យថា : «*អ្នកមើលឃើញដីស្ងួតហួតហែងគ្មានរុក្ខជាតិ លុះយើងបានប្រទានទឹកភ្លៀងចុះមក រុក្ខជាតិទាំងឡាយ ចាប់ផ្ដើមដុះដាលឡើងកក្រើកដី។ វាលូតលាស់ឡើងដោយសារមានទឹក។ រុក្ខជាតិទាំងឡាយដុះដាលឡើងព្រោងព្រាតស្រស់បំព្រងគួរជាទីរីករាយសម្រាប់អ្នកដែលគយគន់មើល*»។

៦. ព្រះជាអ្នកបង្កើត ទ្រង់ដឹងច្បាស់ប្រកបដោយគតិបណ្ឌិត ទ្រង់មហាស្អាតស្អំ ទ្រង់មិនបង្កើតអ្វីនីមួយៗដោយទទេឥតប្រយោជន៍នោះទេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَا خَلَقۡنَا ٱلسَّمَآءَ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَا بَٰطِلٗاۚ ذَٰلِكَ ظَنُّ ٱلَّذِينَ كَفَرُواْۚ فَوَيۡلٞ لِّلَّذِينَ كَفَرُواْ مِنَ ٱلنَّارِ ۝٢٧ ﴾
سورة ص: ٢٧

មានន័យថា : «*យើងពុំបានបង្កើតមេឃនិងផែនដី និងអ្វីៗដែលនៅចន្លោះភពទាំងពីរ ដោយទទេឥតប្រយោជន៍នោះទេ។ វាគ្រាន់ជាការនឹកស្មានរបស់ពួកអ្នកគ្មានជំនឿតែប៉ុណ្ណោះ។ ពួកគេច្បាស់ជាត្រូវវិនាសនៅថ្ងៃបរលោក។ សម្រាប់ពួកគេគឺឋាននរក។ ដោយសារការនឹកស្មាន*

*របស់ពួកគេខុស ទើបមានការជំទាស់មិនព្រមមានជំនឿចំពោះអល់ឡោះ»។*

ជាការពិតណាស់ ទ្រង់បង្កើតសត្វលោកមកនេះប្រកបដោយគតិបណ្ឌិត ហេតុផល និងមានគោលបំណងដ៏ធំធេង។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَا خَلَقْتُ ٱلْجِنَّ وَٱلْإِنسَ إِلَّا لِيَعْبُدُونِ ﴿٥٦﴾ ﴾ سورة الذاريات٥٦

មានន័យថា : *«យើងមិនបានបង្កើតជិន(បង់បត់)និងមនុស្សទេ លើកលែងតែដើម្បីឱ្យពួកគេគោរពសក្ការៈមកចំពោះយើង»។*

មិនសក្តិសមប្រកបដោយគតិបណ្ឌិតដាច់ខាតសម្រាប់ព្រះជាម្ចាស់ដែលរវាងអ្នកគោរពប្រិតិបត្តិ និងអ្នកប្រព្រឹត្តល្មើសមានតម្លៃស្មើគ្នាចំពោះព្រះអង្គនោះ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَمْ نَجْعَلُ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ كَٱلْمُفْسِدِينَ فِى ٱلْأَرْضِ أَمْ نَجْعَلُ ٱلْمُتَّقِينَ كَٱلْفُجَّارِ ﴿٢٨﴾ ﴾سورة ص٢٨



មានន័យថា : «តើយើងទុកពួកអ្នកមានជំនឿ និងប្រតិបត្តិអំពើល្អដូចនឹងពួកអ្នកបង្កវិនាសកម្មនៅលើផែនដីនេះទេ? ឬក៏យើងទុកពួកអ្នកមានជំនឿដែលគោរពកោតខ្លាច ដូចនឹងពួកអនាចារគ្មានជំនឿ?»។

ការដាក់ឱ្យស្មើគ្នាបែបនេះមិនសក្តិសមជាដាច់ខាតចំពោះគតិបណ្ឌិតរបស់អល់ឡោះ និងសុភវិនិច្ឆ័យរបស់ទ្រង់។ ពួកគេពុំស្មើគ្នាទេចំពោះអល់ឡោះ។ អល់ឡោះប្រទានផលបុណ្យចំពោះពួកអ្នកមានជំនឿដែលគោរពកោតខ្លាច ហើយទ្រង់ដាក់ទណ្ឌកម្មពិន័យចំពោះពួក

អនាចារដ៏អភ័ព្វ។ ដូច្នេះ ទើបសុក្រឹតភាពនៃគតិបណ្ឌិតរបស់ទ្រង់ និងអំណាចដ៏ខ្លាំងក្លារបស់ទ្រង់គឺទ្រង់បង្កើតសត្វលោកឱ្យរស់ឡើងវិញនៅថ្ងៃបរលោក ដើម្បីតបស្នងដល់មនុស្សលោកតាមអំពើរបស់គេ។ ទ្រង់ប្រទានផលបុណ្យសម្រាប់ពួកអ្នកធ្វើល្អ ហើយដាក់ទោសចំពោះពួកអ្នកធ្វើអំពើអាក្រក់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِلَيۡهِ مَرۡجِعُكُمۡ جَمِيعٗاۖ وَعۡدَ ٱللَّهِ حَقًّاۚ إِنَّهُۥ يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ لِيَجۡزِيَ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ بِٱلۡقِسۡطِۚ وَٱلَّذِينَ كَفَرُواْ لَهُمۡ شَرَابٞ مِّنۡ حَمِيمٖ وَعَذَابٌ أَلِيمُۢ بِمَا كَانُواْ يَكۡفُرُونَ ٤ ﴾

سورة يونس: ٤

មានន័យថា : *«ចំពោះព្រះជាម្ចាស់របស់ពួកអ្នកជាទីដែលត្រូវវិលត្រលប់របស់ពួកអ្នកទាំងអស់គ្នា។ នេះគឺជាសន្យាដ៏ពិតប្រាកដរបស់អល់ឡោះ។ ទ្រង់ជាអ្នកចាប់ផ្តើមបង្កើតសត្វលោក បន្ទាប់មក ទ្រង់បង្កើតឱ្យគេរស់ឡើងវិញ បន្ទាប់ពីស្លាប់។ ពួកគេនឹងមានជីវិតរស់ដូចដើមវិញដើម្បីតបស្នងឱ្យយុត្តិធម៌ និងប្រសើរបំផុតចំពោះអ្នកដែលមានជំនឿចំពោះទ្រង់ និងអ្នកនាំសាររបស់ទ្រង់ដែលបានប្រតិបត្តិអំពើល្អ។ រីឯអ្នកដែលប្រឆាំងជំទាស់នឹងភាពជាព្រះជាម្ចាស់តែមួយរបស់អល់ឡោះ និងសាររបស់ព្រះ សម្រាប់ពួកគេគឺនឹងទទួលទារុណកម្មដោយផឹកទឹកក្តៅពុះធ្វើឱ្យរលួយមុខ និងក្រពះពោះវៀនរបស់ពួកគេ។ ពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ជាទីបំផុត ព្រោះតែអំពើគ្មានជំនឿរបស់ពួកគេ»។*

# ឥទ្ធិពលចំពោះបុគ្គលនិងសង្គម នៃជំនឿចំពោះថ្ងៃបរលោក

១. មនុស្សចាំបាច់ត្រូវតែយកចិត្តទុកដាក់នឹងការគោរពប្រតិបត្តិចំពោះអល់ឡោះ ប្រាថ្នាចង់បានផលបុណ្យនៅថ្ងៃនោះ និងការជៀសវាងអំពីការប្រព្រឹត្តល្មើស ព្រោះខ្លាចក្រែងត្រូវទទួលទារុណកម្មនៅថ្ងៃនោះផងដែរ។

២. ជំនឿចំពោះថ្ងៃបរលោក វាគឺជាការលួងលោមចិត្តពួកអ្នកមានជំនឿ កុំឱ្យនឹកស្តាយស្រណោះនឹងសេចក្តីសុខ និងទ្រព្យសម្បត្តិលោកីយ៍ ដោយសង្ឃឹមចំពោះសេចក្តីសុខ និងផលបុណ្យនៅថ្ងៃបរលោក។

៣. ជំនឿចំពោះថ្ងៃបរលោកជាការបង្រៀនមនុស្សឱ្យស្គាល់ពីវាសនារបស់ខ្លួន ក្រោយពេលស្លាប់។ គេដឹងថាខ្លួននឹងទទួលនូវការតបស្នងចំពោះការប្រព្រឹត្តរបស់ខ្លួន បើសិនធ្វើល្អបានល្អ ធ្វើអាក្រក់បានអាក្រក់។ គេដឹងទៀតថា នៅថ្ងៃនោះគេនឹងឱ្យឈរចាំជំនុំជម្រះ ហើយគេនឹងរកយុត្តិធម៌ និងទាមទារសិទ្ធិជូនជនរងគ្រោះវិញ។

៤. ជំនឿចំពោះថ្ងៃបរលោក ការពារមនុស្សមិនឱ្យទៅប្រព្រឹត្តអំពើអយុត្តិធម៌ និងរំលោភសិទ្ធិអ្នកដទៃ។ បើសិនជាមនុស្សទាំងអស់ជឿចំពោះថ្ងៃបរលោក ពួកគេនឹងរួចផុតពីការប្រព្រឹត្តអំពើអយុត្តិធម៌ រំលោភជិះជាន់គ្នា និងរក្សាការពារសិទ្ធិរបស់ពួកគេ។

៥. ជឿចំពោះថ្ងៃបរលោក ធ្វើឱ្យមនុស្សមើលឃើញថា លោកីយ៍នេះគ្រាន់តែជាដំណាក់កាលមួយនៃដំណាក់កាលនានាក្នុងជីវិត។ វាពុំមែនជាជីវិតទាំងមូលនោះទេ។

នៅទីបំផុតនៃកថាខណ្ឌនេះ ខ្ញុំសូមលើកយកពាក្យសម្តីរបស់លោក«វេណបេត» មកធ្វើការអះអាង ដែលលោកជាអតីតអ្នកកាន់សាសនាគ្រិស្ត ជនជាតិអាមេរិក ជាបុគ្គលម្នាក់ធ្វើការនៅក្នុងព្រះវិហារគ្រិស្ត។ ក្រោយមកលោកបានចូលសាសនាឥស្លាម ហើយលោកទទួលបាននូវផ្លែផ្កាអំពីជំនឿចំពោះថ្ងៃបរលោក ដោយលោកបាននិយាយថា :« ឥឡូវនេះ ទើបខ្ញុំដឹងពីចម្លើយសម្រាប់ចម្ងល់ចំនួនបួនដែលធ្វើឱ្យជីវិតរបស់ខ្ញុំខ្វល់ខ្វាយជាច្រើនគឺ ខ្ញុំជានរណា? តើខ្ញុំចង់បានអ្វី? ហេតុអ្វីបានជាខ្ញុំមកទីនេះ? តើវាសនារបស់ខ្ញុំនឹងត្រលប់ទៅទីណា?»។

# មូលដ្ឋានគ្រឹះនៃការអំពាវនាវរបស់ពួកអ្នកនាំសារ

ពួកណាពីនិងពួកអ្នកនាំសារទាំងអស់បានឯកភាពគ្នាលើការអំពាវនាវទៅកាន់ឫសគល់រួមមួយមានដូចជា ជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ ថ្ងៃបរលោក វាសនាល្អនិងអាក្រក់។ ក្រៅពីនេះមានដូចជាការបង្គាប់ប្រើឱ្យគោរពសក្ការៈចំពោះអល់ឡោះតែមួយ មិនគោរពពហុទេពរួមជាមួយនឹងទ្រង់ ដើរតាមផ្លូវរបស់ទ្រង់ មិនដើរតាមផ្លូវផ្សេងផ្ទុយពីផ្លូវរបស់ទ្រង់។ ម៉្យាងទៀត ហាមឃាត់នូវអំពើអាក្រក់បួនប្រការដូចជា អំពើអបាយមុខទូទៅទាំងលាក់បាំងនិងបើកចំហ អំពើបាប(ការបំពានដោយខុសច្បាប់) ការគោរពពហុទេពរួមជាមួយអល់ឡោះ ការគោរពជំនឿអរូបី និងរូបបដិមា។ ម៉្យាងវិញទៀត ត្រូវលើកតម្កើងទ្រង់ឱ្យជ្រះស្អាតពីការមានប្រពន្ធកូន ដៃគូ គូប្រៀប រូបតំណាង ហាមឃាត់ការចងការប្រាក់ កេងប្រវ័ញ្ចទ្រព្យសម្បត្តិកុមារកំព្រា។ ពិសេសជាងនេះ គឺបង្គាប់ឱ្យគោរពពាក្យសន្យាថ្លឹង និងវាល់ឱ្យគ្រប់ចំនួន កតញ្ញូចំពោះឪពុកម្តាយ ផ្តល់យុត្តិធម៌ជូនមនុស្សទូទៅ ពាក្យសម្តីស្មោះត្រង់ ការអនុវត្ត ជៀសវាងពីការខ្ជះខ្ជាយ ការក្រអឺតក្រទម កេងប្រវ័ញ្ចទ្រព្យសម្បត្តិអ្នកដទៃ និងរកស៊ីខុសច្បាប់បោកប្រាស់គេ។

អិបនូកៃយិមបាននិយាយថា : ក្បួនច្បាប់សាសនាទាំងមូលឋិតនៅក្នុងឫសគល់នេះ បើទោះជាផ្សេងៗពីគ្នា តែនៅមានចំណុចឯកភាពគ្នា។ គុណតម្លៃរបស់វាគឺចាក់គ្រឹះយ៉ាងរឹងមាំក្នុងអព្ភន្តរញ្ញាណរបស់

មនុស្ស។ បើសិនជាគេអនុវត្តឱ្យខុសពីឫសគល់ទាំងនេះ គឺវានឹងខ្វាត់បង់ពីគតិបណ្ឌិត គុណប្រយោជន៍ និងមេត្តាធម៌។ ក៏ប៉ុន្តែគេមិនអាចប្រព្រឹត្តផ្ទុយនឹងឫសគល់នេះបានឡើយ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَلَوِ ٱتَّبَعَ ٱلۡحَقُّ أَهۡوَآءَهُمۡ لَفَسَدَتِ ٱلسَّمَٰوَٰتُ وَٱلۡأَرۡضُ وَمَن فِيهِنَّۚ ﴾ سورة المؤمنون: ٧١

មានន័យថា ៖ «*បើសិនជាអល់ឡោះជាម្ចាស់ ទ្រង់បញ្ញត្តិច្បាប់មកតាមទំនើងចិត្តរបស់ពួកគេនោះ មេឃទាំងប្រាំពីរជាន់ ផែនដី និងអ្វីដែលនៅលើភពទាំងពីរនឹងត្រូវវិនាសអន្តរាយជាមិនខាន*»។

ហេតុដូច្នេះ ទើបសាសនារបស់ពួកណាពី គឺជាសាសនាតែមួយ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ يَٰٓأَيُّهَا ٱلرُّسُلُ كُلُواْ مِنَ ٱلطَّيِّبَٰتِ وَٱعۡمَلُواْ صَٰلِحًاۖ إِنِّي بِمَا تَعۡمَلُونَ عَلِيمٞ ٥١ وَإِنَّ هَٰذِهِۦٓ أُمَّتُكُمۡ أُمَّةٗ وَٰحِدَةٗ وَأَنَا۠ رَبُّكُمۡ فَٱتَّقُونِ ٥٢ ﴾ سورة المؤمنون: ٥١ - ٥٢

មានន័យថា ៖«*នែពួកអ្នកនាំសារទាំងឡាយ! ចូរទទួលទានចំណីអាហារដែលស្អាតស្អំស្របច្បាប់។ ចូរប្រព្រឹត្តអំពើកុសលធម៌។ ពិតណាស់ យើងដឹងច្បាស់ពីអ្វីដែលពួកអ្នកបានប្រតិបត្តិ។ នែពួកអ្នកនាំសារទាំងឡាយ! ពិតណាស់ សាសនារបស់ពួកអ្នកគឺជាសាសនាតែមួយគឺឥស្លាម។ យើងជាព្រះជាម្ចាស់របស់ពួកអ្នក។ ចូរកោតខ្លាចចំពោះយើងដោយប្រតិបត្តិបទបញ្ជារបស់យើង និងជៀសវាងពីបម្រាមរបស់យើង*»។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ شَرَعَ لَكُم مِّنَ ٱلدِّينِ مَا وَصَّىٰ بِهِۦ نُوحًا وَٱلَّذِيٓ أَوۡحَيۡنَآ إِلَيۡكَ وَمَا وَصَّيۡنَا بِهِۦٓ إِبۡرَٰهِيمَ وَمُوسَىٰ وَعِيسَىٰٓۖ أَنۡ أَقِيمُواْ ٱلدِّينَ وَلَا تَتَفَرَّقُواْ فِيهِۚ ﴾ سورة الشورى: ١٣

មានន័យថា :«*នែមនុស្សលោកទាំងឡាយ! អល់ឡោះជាម្ចាស់ទ្រង់បានបញ្ញត្តិច្បាប់សាសនាដែលទ្រង់បានត្រាស់បន្ទូលទៅកាន់ឯងនោះគឺសាសនាឥស្លាម។ ទ្រង់បានផ្តាំផ្ញើចំពោះណួសឱ្យប្រតិបត្តិ និងផ្សព្វផ្សាយ ហើយវាក៏ជាសាសនាដែលយើងបានផ្តាំផ្ញើទៅចំពោះអ៊ីព្រហ៊ីម មូសា អ៊ីសា(យេស៊ូ)។ យើងឱ្យពួកគេកសាងសាសនានេះឡើង ដោយឈរលើជំនឿឯកទេវៈ ការគោរពប្រតិបត្តិអល់ឡោះ គោរពសក្ការៈចំពោះទ្រង់ដោយគ្មានអ្នកដទៃរួមចំណែក។ ចូរកុំបែកបាក់គ្នាឱ្យសោះក្នុងសាសនាដែលយើងបានបង្គាប់ប្រើចំពោះពួកអ្នក*»។

តាមពិតគោលបំណងរបស់សាសនា គឺសម្រេចគោលបំណងដែលគេបានបង្កើតមនុស្សលោកមកក្នុងលោកីយ៍នេះ។ គោលបំណងគឺការគោរពសក្ការៈចំពោះព្រះជាម្ចាស់របស់ពួកគេដោយគ្មានដៃគូរួមចំណែកជាមួយទ្រង់។ ទ្រង់បានកំណត់កាតព្វកិច្ចដែលពួកគេត្រូវអនុវត្ត ហើយទ្រង់បានធានាសម្រាប់ពួកគេ។ ទ្រង់ផ្តល់នូវមធ្យោបាយដើម្បីធ្វើឱ្យពួកគេទទួលបានសម្រេចតាមគោលបំណង និងទទួលបាននូវការសព្វព្រះទ័យរបស់អល់ឡោះ ហើយទទួលបានបរមសុខទាំងពីរឋាន ស្របតាមមាគ៌ារបស់ព្រះ ដែលមិនធ្វើឱ្យមនុស្សលោកវិលវល់មិនដឹងទិសដៅ មិនធ្វើឱ្យមនុស្សខ្វល់ខ្វាយទាល់គំនិត មិនធ្វើឱ្យប៉ះទង្គិចរវាងនិស្ស័យពីកំណើត វិញ្ញាណ និងពិភពដែលនៅជុំវិញខ្លួនរបស់គេ។

ពួកអ្នកនាំសារទាំងអស់អំពាវនាវទៅរកសាសនារបស់ព្រះ ដែលផ្ដល់ជូនមនុស្សជាតិនូវជំនឿគ្រឹះដែលខ្លួនគេត្រូវជឿ ហើយផ្ដល់នូវបញ្ញត្តិច្បាប់ដែលជាផ្លូវសម្រាប់ជីវិតរបស់គេ។ ដូច្នេះ គម្ពីរតាវ៉រតគឺជាជំនឿ និងជាច្បាប់បញ្ញត្តិ ហើយបានបង្គាប់ឱ្យពួកគេកាត់សេចក្ដីតាមបញ្ញត្តិច្បាប់នេះ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ إِنَّآ أَنزَلۡنَا ٱلتَّوۡرَىٰةَ فِيهَا هُدٗى وَنُورٞۚ يَحۡكُمُ بِهَا ٱلنَّبِيُّونَ ٱلَّذِينَ أَسۡلَمُواْ لِلَّذِينَ هَادُواْ وَٱلرَّبَّٰنِيُّونَ وَٱلۡأَحۡبَارُ ﴾ سورة المائدة: ٤٤

មានន័យថា :«*ពិតណាស់ យើងបានប្រទានគម្ពីរតាវ៉រតចុះមក។ ក្នុងគម្ពីរនេះពោរពេញដោយការចង្អុលបង្ហាញ និងការបកស្រាយបំភ្លឺពីក្បួនច្បាប់។ វាជាគម្ពីរដែលពួកណាពីបានយកទៅអនុវត្តក្នុងការកាត់សេចក្ដី។ ពួកណាពីបានអនុវត្តតាម និងទទួលស្គាល់បញ្ញត្តិច្បាប់របស់អល់ឡោះក្នុងការកាត់សេចក្ដីជូនពួកយ៉ាហ៊ូឌី ហើយពួកបព្វជិត និងមេសាសនារបស់ពួកគេក៏យកច្បាប់នេះទៅអនុវត្តក្នុងការកាត់សេចក្ដីដូចគ្នាផងដែរ*»។

លុះសម័យក្រោយមក អ៊ីសាបានមកដល់ ហើយបាននាំមកនូវគម្ពីរអិញ្ជីល។ នៅក្នុងគម្ពីរនេះក៏មានការចង្អុលបង្ហាញ និងការស្រាយបំភ្លឺពីក្បួនច្បាប់នានា ដើម្បីបញ្ជាក់ពីសច្ចភាពដែលមាននៅក្នុងគម្ពីរតាវ៉រត។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَقَفَّيۡنَا عَلَىٰٓ ءَاثَٰرِهِم بِعِيسَى ٱبۡنِ مَرۡيَمَ مُصَدِّقٗا لِّمَا بَيۡنَ يَدَيۡهِ مِنَ ٱلتَّوۡرَىٰةِۖ وَءَاتَيۡنَٰهُ ٱلۡإِنجِيلَ فِيهِ هُدٗى وَنُورٞ ﴾ سورة المائدة: ٤٦

មានន័យថា :« *បន្ទាប់ពីពួកណាពីទាំងនោះយើងបានបញ្ជូនណាពីម្នាក់នៃអំបូរអ៊ីស្រាអែលឈ្មោះ អ៊ីសា(យេស៊ូ)កូននាងម៉ារី ដែលមានជំនឿចំពោះគម្ពីរតាវរ៉តដើម្បីអនុវត្តតាមក្បួនច្បាប់ដែលមានក្នុងគម្ពីរនេះ ហើយយើងបានបញ្ចុះគម្ពីរអិញ្ជីលមកទៀត ជាការចង្អុលបង្ហាញទៅរកសច្ចភាព និងស្រាយបំភ្លឺពីក្បួនច្បាប់ដែលមនុស្សមិនទាន់ដឹង*»។

លុះនៅសម័យចុងក្រោយបង្អស់ អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនសាហាវីមូហាំម៉ាត់ដោយនាំមកជាមួយនូវបញ្ញត្តិច្បាប់ចុងក្រោយបង្អស់ ជាសាសនាដ៏ពេញលេញ គ្របដណ្តប់លើក្បួនច្បាប់សាសនាមុនៗ និងបញ្ជាក់ពីសច្ចភាពដែលមាននៅក្នុងគម្ពីរមុនៗ។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ وَأَنزَلْنَآ إِلَيْكَ ٱلْكِتَـٰبَ بِٱلْحَقِّ مُصَدِّقًا لِّمَا بَيْنَ يَدَيْهِ مِنَ ٱلْكِتَـٰبِ وَمُهَيْمِنًا عَلَيْهِ ۖ فَٱحْكُم بَيْنَهُم بِمَآ أَنزَلَ ٱللَّهُ ۖ وَلَا تَتَّبِعْ أَهْوَآءَهُمْ عَمَّا جَآءَكَ مِنَ ٱلْحَقِّ ﴾ سورة المائدة: ٤٨

មានន័យថា : «*នៃអ្នកនាំសារមូហាំម៉ាត់! យើងបានប្រទានគម្ពីរអាល់គួរអានចុះមកឱ្យឯង។ អ្វីៗគ្រប់យ៉ាងមាននៅក្នុងគម្ពីរនេះជាសច្ចភាពបញ្ជាក់ពីភាពត្រឹមត្រូវនៃគម្ពីរមុនៗ ហើយបញ្ជាក់ថា គម្ពីរទាំងនោះមកអំពីអល់ឡោះ។ គម្ពីរនេះបញ្ជាក់ពីសច្ចភាព និងស្រាយបំភ្លឺពីការកែប្រែដែលមានក្នុងគម្ពីរមុនៗ។ ដូច្នេះ ចូរអ្នកកាត់សេចក្តីជូនពួកគេ តាមគម្ពីរដែលទ្រង់បានប្រទានចុះមកនេះ។ ចូរអ្នកកុំធ្វើតាមទំនើងចិត្តរបស់ពួកគេ និងកុំបោះបង់សច្ចភាពដែលអ្នកបាននាំមក*»។

អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជាក់ថា អ្នកនាំសារមូហាំម៉ាត់ និងពួកអ្នកមានជំនឿសុទ្ធតែជឿចំពោះពួកណាពី និងពួកអ្នកនាំសារមុនៗ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ ءَامَنَ ٱلرَّسُولُ بِمَآ أُنزِلَ إِلَيۡهِ مِن رَّبِّهِۦ وَٱلۡمُؤۡمِنُونَۚ كُلٌّ ءَامَنَ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ وَكُتُبِهِۦ وَرُسُلِهِۦ لَا نُفَرِّقُ بَيۡنَ أَحَدٖ مِّن رُّسُلِهِۦۚ وَقَالُواْ سَمِعۡنَا وَأَطَعۡنَاۖ غُفۡرَانَكَ رَبَّنَا وَإِلَيۡكَ ٱلۡمَصِيرُ ٢٨٥ ﴾

سورة البقرة: ٢٨٥

មានន័យថា : «*មូហាំម៉ាត់ គឺជាអ្នកនាំសារដែលមានជំនឿចំពោះអ្វីដែលព្រះជាម្ចាស់របស់គេបានប្រទានចុះមក ហើយពួកអ្នកមានជំនឿទាំងឡាយក៏មានជំនឿដូច្នេះដែរ។ ពួកគេទាំងអស់មានជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ។ ពួកយើងមិនបែងចែកនរណាម្នាក់ក្នុងចំណោមពួកអ្នកនាំសារទាំងនោះទេ។ ពួកគេនិយាយថា ពួកយើងស្តាប់និងប្រតិបត្តិ។ បពិត្រព្រះជាម្ចាស់! សូមទ្រង់មេត្តាខន្តីអភ័យទោស។ វាសនានៃអ្វីៗគ្រប់យ៉ាងប្រាដកជាត្រូវវិលត្រលប់ទៅរកទ្រង់ជាមិនខាន*»។

## សារដ៏អមតៈ

ការបង្ហាញពីស្ថានភាពសាសនាកន្លងមក ដូចជាសាសនាជ្វីហ្វ គ្រិស្ត ព្រះអគ្គី ជំនឿពហុទេព និងជំនឿអរូបី គឺបង្ហាញពីស្ថានភាពមនុស្សនៅសតវត្សទី៦គ.ស.។ បើសិនជាសាសនាវិនាស ស្ថានភាពនយោបាយ សង្គម និងសេដ្ឋកិច្ចក៏ត្រូវវិនាសដែរ។ សង្គ្រាមកាប់សម្លាប់ជាទូទៅ ការសម្លាប់រង្គាល បានកើតឡើងដោយភាពងងឹតអន្ធការនៃការគ្មានជំនឿ និងអវិជ្ជា ក្រមសីលធម៌ធ្លាក់ចុះដុនដាប កិត្តិយស និងសិទ្ធិសេរីភាពត្រូវគេរំលោភបំពាន កើតមានការបង្កវិនាសកម្មទាំងនៅលើគោកនិងនៅលើទឹក។ បើសិនជាមនុស្សមានបញ្ញាត្រិះរិះពិចារណានឹងដឹងថា នៅសម័យនោះមនុស្សកំពុងដកដង្ហើមចង្រិត ហើយស្ទើរតែវិនាសហិនហោច។ អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនមកជាបន្ទាន់នូវអ្នកនាំសាររបស់ទ្រង់ដ៏ឧត្តុង្គឧត្តមម្នាក់ ទទួលបន្ទុកជាអ្នកកាន់ភ្លើងគប់នៃភាពក្លាយជាណាពី និងប្រទីបនៃការចង្អុលបង្ហាញ ដើម្បីបំភ្លឺផ្លូវដល់មនុស្សជាតិ និងចង្អុលបង្ហាញពួកគេទៅកាន់ផ្លូវដែលត្រឹមត្រូវ។

នៅក្នុងសម័យនោះអល់ឡោះជាម្ចាស់ទ្រង់បានអនុញ្ញាតឱ្យពន្លឺនៃការតែងតាំងណាពីដ៏អមតៈនេះរះឡើងនៅទីក្រុងម៉ាក្កះជាទឹកដីស័ក្កិសិទ្ធិដែលក្នុងនគរនេះមានព្រះវិហារដ៏ពិសិដ្ឋ និងឧត្តុង្គឧត្តម។ ជាការពិតណាស់ មជ្ឈដ្ឋានរស់នៅក្នុងនគរនេះក៏មិនខុសពីមជ្ឈដ្ឋានមនុស្សជាតិផ្សេងទៀតដែរ គឺពោរពេញដោយជំនឿគោរពពហុទេព អវិជ្ជា អយុត្តិធម៌ ការបង្ហូរឈាមកាប់សម្លាប់ គ្រាន់តែពិសេសជាងមជ្ឈដ្ឋានផ្សេងដោយប្រការមួយចំនួនដូចជា៖

១.មជ្ឈដ្ឋានជ្រះស្អាតមិនទទួលឥទ្ធិពលពីមនោគមវិជ្ជាក្រិក ឬរ៉ូម៉ាំង ឬឥណ្ឌា។ មនុស្សក្នុងមជ្ឈដ្ឋាននេះមានសេរីភាពក្នុងការបញ្ចេញមតិ ប្រាជ្ញាឈ្លាសវៃ មានទេពកោសល្យច្នៃប្រឌិត។

២. ទីក្រុងនេះឋិតនៅចំកណ្តាលពិភពលោក ជាតំបន់ដែលនៅចំពាក់កណ្តាលរវាងអឺរ៉ុប អាស៊ី អាហ្វ្រិក។ ជាតំបន់យុទ្ធសាស្ត្រដ៏សំខាន់ដែលនាំឱ្យសារដ៏អមតៈនេះរីកសុសសាយយ៉ាងលឿនគ្របដណ្តប់លើតំបន់ផ្សេងៗក្នុងរយៈពេលដ៏ខ្លីបំផុត។

៣. គឺជានគរមួយដែលមានសន្តិភាព ដោយអល់ឡោះជាម្ចាស់ទ្រង់ថែរក្សាការពារនៅពេលស្តេចអាព្រហះចង់វាយលុកឈ្លានពាននគរនេះ។ ចក្រភពពីរដែលនៅក្បែរខាងនគរនេះគឺអាណាចក្រពែក និងអាណាចក្ររ៉ូម មិនដែលបានត្រួតត្រាលើនគរនេះឡើយ។ សូម្បីតែការជួញដូររបស់នគរនេះទាំងខាងជើង និងខាងត្បូងក៏មានស្ថេរភាពល្អដែរ។ នេះគឺជាកាត្រួសត្រាយសម្រាប់ការបញ្ជូនណាពីដ៏ប្រពៃនេះ។ ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានរំឭកអ្នកស្រុកនេះនឹងពរជ័យដែលទ្រង់បានប្រទានដល់ពួកគេ ដោយទ្រង់បានមានព្រះបន្ទូលថា :

﴿ أَوَلَمْ نُمَكِّن لَّهُمْ حَرَمًا ءَامِنًا يُجْبَىٰٓ إِلَيْهِ ثَمَرَٰتُ كُلِّ شَىْءٍ رِّزْقًا مِّن لَّدُنَّا ﴿٥٧﴾ ﴾ سورة القصص: ٥٧

មានន័យថា :*តើមិនមែនទេឬដែលយើងបានប្រទានសន្តិភាពដល់ពួកគេក្នុងទឹកដីដ៏ពិសិដ្ឋនោះ? គេបាននាំគ្រាប់ធញ្ញជាតិគ្រប់យ៉ាងមកកាន់នគរនេះជាលាភសក្ការៈអំពីយើងសម្រាប់ពួកគេ។*

៤.នគរនេះគឺជាមជ្ឈដ្ឋានវាលខ្សាច់សាហារ៉ា។ វាជាមជ្ឈដ្ឋានដែលបានរក្សានូវលក្ខណៈសម្បត្តិប្រពៃជាច្រើនដូចជាទឹកចិត្តសប្បុរស ការពារញាតិ គិតគូរពីកិត្តិយស និងកេរ្តិ៍ឈ្មោះ និងលក្ខណៈពិសេសផ្សេងៗទៀតដែលមាននីតិសម្បទាស័ក្តិសមនឹងទទួលសារដ៏អមតៈនេះ។

ទឹកដីពិសិដ្ឋ និងកុលសម្ព័ន្ធគូរ៉ស្សដ៏ឧត្តមដែលល្បីល្បាញខាងវោហារកំណាព្យ និងសំនួនវោហារ សីលធម៌ល្អដែលជាកិត្តិយស និងបូរណភាពរបស់ពួកគេ គឺអល់ឡោះជាម្ចាស់ទ្រង់បានតែងតាំងមូហាំម៉ាត់ជាណាពី និងជាអ្នកនាំសារចុងក្រោយបង្អស់។ លោកបានកើតនៅសតវត្សទី៦ប្រហែលជាឆ្នាំ៥៧០គ.ស.។ លោកជាកូនកំព្រា ដែលឪពុកបានស្លាប់តាំងពីនៅជាទារកក្នុងផ្ទៃម្តាយ។ បន្ទាប់មក ម្តាយនិងជីតាខាងឪពុករបស់លោកក៏បានស្លាប់ទៀតនៅពេលលោកមានអាយុ៦ឆ្នាំ។ ឪពុកមារបស់លោកឈ្មោះអាពូតឡិប ជាអ្នកចិញ្ចឹមបីបាច់ថែរក្សារហូតដល់ធំ។ លោកកើតមកជាកូនកំព្រា។ មាននិមិត្តសញ្ញាបង្ហាញពីទេពកោសល្យរបស់លោកបានលេចឡើងចេញពីខ្លួនរបស់លោក។ ទម្លាប់ អាកប្បកិរិយា និងចរិតរបស់លោកខុសពីទំនៀមទម្លាប់សាសន៍របស់លោក។ លោកមិនដែលនិយាយកុហក មិនដែលបៀតបៀនអ្នកដទៃ។ លោកមានឈ្មោះល្បីដោយសារភាពស្មោះត្រង់ ភាពស្អាតស្អំ និងមានជំនឿទុកចិត្ត រហូតដល់មានមនុស្សជាច្រើន នៃសាសន៍របស់លោកបានយកទ្រព្យសម្បត្តិ លុយកាក់មកផ្ញើជាមួយលោក។ លោកបានរក្សាទ្រព្យបញ្ញើទាំងនោះដូចជារក្សាខ្លួន និងទ្រព្យសម្បត្តិផ្ទាល់ខ្លួន។ ទង្វើបែបនេះនាំឱ្យពួកគេដាក់ងារលោកថា«អាល់អាមីន(បុគ្គល

ស្មោះត្រង់)»។ លោកជាមនុស្សម្នាក់ដែលមានការអៀនខ្មាសច្រើន ចាប់តាំងពីគាត់ពេញវ័យ។ លោកមិនដែលលែងខ្លួនទទេឱ្យគេមើល ឃើញខ្លួនលោកនោះទេ។ លោកគឺជាមនុស្សស្អាតស្អំ និងគោរពវិន័យ និងមានការឈឺចាប់យ៉ាងខ្លាំងដែលឃើញសាសន៍របស់លោកកំពុង គោរពបូជាចំពោះរូបសំណាក ផឹកស្រា កាប់សម្លាប់គ្នា។ លោក ប្រាស្រ័យទាក់ទងជាមួយនឹងសាសន៍របស់លោកតាមអ្វីដែលលោក ពេញចិត្ត ហើយជៀសវាងពីប្រការទាំងឡាយដែលពួកគេធ្វើឆ្គួតៗ និងអំពើអបាយមុខនានារបស់ពួកគេ។ លោកតែងតែជួយផ្គត់ផ្គង់ដល់ កូនកំព្រា ស្ត្រីមេម៉ាយ និងមនុស្សទីទ័លក្រខ្វះខាត។ លុះដល់លោក មានអាយុសែសិបឆ្នាំ លោកកាន់តែតឹងទ្រូងខ្លាំងចំពោះអំពើបាបកម្ម ដែលកើតមាននៅជុំវិញខ្លួន ហើយបានចាប់ផ្តើមដកខ្លួនចេញពីពួកគេ ទៅកាន់រូងភ្នំ ដើម្បីគោរពសក្ការៈចំពោះព្រះជាម្ចាស់ បួងសួងសុំឱ្យ ទ្រង់ចង្អុលបង្ហាញពួកគេទៅកាន់ផ្លូវដ៏ត្រឹមត្រូវ។ ខណៈដែលលោក កំពុងសក្ការៈបូជានេះមានទេវតាមួយអង្គ បានចុះមកដោយនាំការ ត្រាស់បន្ទូលពីព្រះជាម្ចាស់មកជួបលោក ហើយបញ្ជាលោកឱ្យនាំ សាសនានេះទៅផ្សព្វផ្សាយប្រាប់មនុស្សលោក និងអំពាវនាវពួកគេ ទៅរកការគោរពសក្ការៈចំពោះព្រះជាម្ចាស់ បោះបង់ការគោរពបូជាអ្វី ផ្សេងក្រៅពីទ្រង់។ ការត្រាស់បន្ទូលរបស់ព្រះនៅតែបន្តចុះមកដែល មានចែងនូវនីតិបញ្ញត្តិ និងក្បួនច្បាប់ផ្សេងៗពីមួយថ្ងៃទៅមួយថ្ងៃ ពី មួយឆ្នាំទៅមួយឆ្នាំ រហូតដល់អល់ឡោះជាម្ចាស់ទ្រង់បានបំពេញលក្ខ ណៈសាសនានេះសម្រាប់មនុស្សជាតិ។ ទ្រង់បានប្រទានពរជ័យគ្រប់

គ្រាន់ពេញលេញដល់មនុស្សជាតិ បន្ទាប់ពីសាសនានេះបានបញ្ចុះមកពេញលក្ខណៈ។ លុះបេសកកម្មរបស់លោកបានបញ្ចប់ អល់ឡោះជាម្ចាស់ទ្រង់បានដកយកជីវិតរបស់លោក ហើយលោកក៏បានទទួលមរណភាពនៅអាយុ៦៣ឆ្នាំ។ អាយុនេះ គឺគិតទាំងអាយុសែសិបឆ្នាំមុនក្លាយជាណាពី និងម្ភៃបីឆ្នាំក្រោយក្លាយជាណាពី និងជាអ្នកនាំសារ។

ជនណាត្រិះរិះពិចារណាអំពីស្ថានភាពរបស់ពួកណាពី និងសិក្សាអំពីជីវប្រវត្តិរបស់ពួកគេ ជននោះនឹងទទួលបានចំណេះដឹងយ៉ាងជាក់លាក់។ មិនមានមធ្យោបាយណាមួយដែលបញ្ជាក់ពីភាពពិតនៃការក្លាយជាណាពីរបស់ណាពីណាម្នាក់ដែលប្រសើរជាងភាពពិតនៃភាពក្លាយជាណាពីរបស់មូហាំម៉ាត់។

បើសិនជាអ្នកសង្កេតពីការផ្ទេរភាពក្លាយជាណាពីនេះពីមូសាទៅអ៊ីសា នោះអ្នកនឹងដឹងថាគឺការផ្ទេរជាបន្តបន្ទាប់ ហើយការផ្ទេរបន្តបន្ទាប់នៃភាពក្លាយជាណាពីរបស់មូហាំម៉ាត់គឺធំធេងបំផុត គួរជាទីទុកចិត្តបំផុត និងជាសម័យកាលដ៏ជិតបំផុត។ ក៏ដូចគ្នាដែរ ភាពអច្ឆរិយៈដែលបានកើតឡើងបន្តបន្ទាប់គ្នា ហើយសញ្ញាភស្តុតាងរបស់ពួកគេស្រដៀងៗគ្នា។ មិនតែប៉ុណ្ណោះអច្ឆរិយភាពរបស់មូហាំម៉ាត់ធំធេងជាងគេ ព្រោះសញ្ញាភស្តុតាងរបស់លោកមានច្រើន ហើយសញ្ញាភស្តុតាងដែលឧត្តុង្គឧត្តមជាងគេ គឺគម្ពីរអាល់គួរអានដែលមាននិរន្តរភាពទាំងសូរសម្លេង និងតួអក្សររហូតដល់សព្វថ្ងៃ។

ជនណាដែលធ្វើការប្រៀបធៀបរវាងអ្វីដែលមូសា និងអ៊ីសានាំមក និងអ្វីដែលមូហាំម៉ាត់នាំមកនូវជំនឿដ៏ត្រឹមត្រូវ ក្បួនច្បាប់ដ៏សុក្រឹត

និងចំណេះដឹងដ៏មានប្រយោជន៍ គឺគេនឹងដឹងយ៉ាងច្បាស់ថា ទាំងអស់នេះចេញមកពីប្រភព និងពន្លឺចង្កៀងតែមួយ ដែលជាចង្កៀងនៃភាពក្លាយជាណាពី។

ជនណាប្រៀបធៀបរវាងស្ថានភាពពួកសាវ័ករបស់ពួកណាពី និងពួកសាវ័ករបស់ណាពីមូហាំម៉ាត់ អ្នកនោះនឹងដឹងថា ពួកគេគឺជាមនុស្សដ៏ប្រសើរបំផុតសម្រាប់មនុស្ស។ លើសពីនេះ ពួកគេគឺជាអ្នកដែលមានឥទ្ធិពលខ្លាំងជាងគេចំពោះពួកអ្នកជំនាន់ក្រោយ។ ពួកគេបានផ្សព្វផ្សាយជំនឿឯកទេវៈ ពង្រីកនិងពង្រឹងភាពយុត្តិធម៌ ពួកគេជាក្ដីមេត្តាសម្រាប់ពួកអ្នកទន់ខ្សោយ និងពួកអ្នកក្រីក្រទាំងឡាយ។

បើសិនជា អ្នកចង់បានអំណះអំណាងថែមទៀតទាក់ទងនឹងភាពក្លាយជាណាពីរបស់មូហាំម៉ាត់ ខ្ញុំសូមនាំភស្តុតាង និងសញ្ញាសម្គាល់ដែលអាលី ពិន រ៉ប់ហ្ពាន អាត់តប់រីយ៏ គាត់បានស្រាវជ្រាវរកឃើញ។ ពីមុនគាត់ជាគ្រឹស្ទានម្នាក់ ហើយនេះជាមូលហេតុដែលធ្វើឱ្យគាត់ចូលឥស្លាម ដោយសារអំណះអំណាងទាំងនេះ។

១. អំពាវនាវមនុស្សទៅរកការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់តែមួយគត់ បោះបង់ការគោរពបូជាអ្វីៗផ្សេងក្រៅពីទ្រង់ ដែលពួកណាពីទាំងអស់ឯកភាពគ្នាតែមួយលើចំណុចនេះ។

២. ពិតណាស់ណាពីមូហាំម៉ាត់បាននាំមកនូវសញ្ញាភស្តុតាងដ៏ជាក់ច្បាស់។ គ្មាននរណាម្នាក់នាំមកនូវសញ្ញាភស្តុតាងទាំងនេះ លើកលែងតែពួកណាពីរបស់អល់ឡោះ។

៣. លោកបានប្រាប់ពីព្រឹត្តិការណ៍អនាគត ហើយក្រោយមកបានកើតឡើង ដូចអ្វីដែលលោកបានប្រាប់។

៤. លោកបានប្រាប់ពីព្រឹត្តិការណ៍ជាច្រើនទាក់ទងនឹងព្រឹត្តិការណ៍ក្នុងលោកនេះ ហើយព្រឹត្តិការណ៍ទាំងនោះបានកើតឡើងដូចលោកបានប្រាប់មែន។

៥. គម្ពីរដែលណាពីមូហាំម៉ាត់បាននាំមក គឺជាគម្ពីរអាល់គួរអានជាសញ្ញាភស្តុតាងនៃភាពក្លាយជាណាពី។ អល់ឡោះជាម្ចាស់បានប្រទានចុះមកឱ្យបុរសម្នាក់ដែលជាអនក្ខរជនមិនចេះអាន មិនចេះសរសេរ។ ទ្រង់បានប្រកាសឱ្យពួកអ្នកប្រាជ្ញ កវី មកប្រកួតប្រជែងជាមួយនឹងលោក ធ្វើយ៉ាងណានិពន្ធឱ្យដូចគម្ពីរនេះទាំងមូល ឬនិពន្ធឱ្យបានមួយជំពូក។ ពីព្រោះអល់ឡោះជាម្ចាស់ទ្រង់ធានាថែរក្សា និងអភិរក្សគម្ពីរនេះ។ តាមរយៈគម្ពីរនេះទ្រង់បានថែរក្សាជំនឿដ៏ត្រឹមត្រូវ និងបានចែងអំពីក្បួនច្បាប់ដ៏សុក្រឹត ពេញលក្ខណៈ ហើយគម្ពីរនេះបានប្រតិបត្តិពីសំណាក់ប្រជាជាតិដ៏ឧត្តុង្គឧត្តមបំផុត។

៦. លោកគឺជាណាពីចុងក្រោយបង្អស់។ បើសិនជាគេមិនបញ្ជូនលោកមក ដំណឹងរបស់ពួកណាពីជំនាន់មុនដែលប្រាប់អំពីការបញ្ជូនលោកនឹងក្លាយជាមោឃៈ។

៧. ពួកណាពីទាំងឡាយបានប្រាប់ពីការមកដល់របស់លោក មុននឹងលោកចាប់កំណើតតាំងពីយូរលង់ណាស់មកហើយ។ ពួកគេបានរៀបរាប់ពីកន្លែង ប្រទេសដែលគេនឹងបញ្ជូនលោកមក។ ការចុះចូលរបស់ស្តេច និងប្រជាជាតិផ្សេងៗឋិតក្រោមចំណុះប្រជាជាតិរបស់

លោក ហើយបាននិយាយអំពីការរីកសុសសាយនៃសាសនារបស់លោកផងដែរ។

៨. ជ័យជំនះរបស់លោកលើប្រជាជាតិផ្សេងៗដែលធ្វើសង្គ្រាមប្រឆាំងនឹងលោកគឺជាសញ្ញាភស្តុតាងបញ្ជាក់ពីភាពក្លាយជាណាពីរបស់លោក។ ពីព្រោះមិនអាចកើតឡើងជាដាច់ខាតបុគ្គលដែលបោកប្រាស់ដោយអះអាងថា ខ្លួនជាអ្នកដែលអល់ឡោះបញ្ជូនមកជាអ្នកនាំសារ ហើយអល់ឡោះជាម្ចាស់ទ្រង់ប្រទានជ័យជំនះ អំណាច សញ្ញ័យលើសត្រូវ ការផ្សព្វផ្សាយបានរីកសុសសាយ មានអ្នកដើរតាមច្រើននោះ។ រឿងទាំងនេះមិនអាចកើតឡើងជាដាច់ខាត លុះត្រាអ្នកនោះជាណាពីពិតប្រាកដ។

៩. គុណសម្បត្តិទាំងឡាយដែលលោកមានដូចជា ការគោរពប្រតិបត្តិ ចិត្តបរិសុទ្ធ ទៀងត្រង់ មានជីវប្រវត្តិល្អ លទ្ធិនិងក្បួនច្បាប់របស់លោកល្អសុក្រឹត។ គ្មាននរណាមានគុណសម្បត្តិទាំងនេះ លើកលែងតែអ្នកនោះជាណាពីពិតប្រាកដ។

គាត់បានស្វែងយល់ពីរឿងនេះ បន្ទាប់ពីគាត់បានឃើញនូវភស្តុតាងទាំងនេះ។ នេះគឺជាគុណសម្បត្តិ និងជាសាក្សីដ៏ពេញលេញ។ អ្នកណាមានគុណសម្បត្តិទាំងនេះ អ្នកនោះគឺជាណាពីយ៉ាងពិតប្រាកដ។ ព្រេងវាសនាល្អបានកំណត់ ហើយសច្ចភាពរបស់លោកចាំបាច់ត្រូវតែឈ្នះ។ ដូច្នេះ ចាំបាច់ត្រូវតែមានជំនឿចំពោះលោក។ រីឯអ្នកច្រានចោល បដិសេធ មិនទទួលស្គាល់ភស្តុតាងទាំងនោះ អ្នកនោះនឹងត្រូវខកបំណង ខាតបង់ទាំងលោកិយ៍ និងបរលោក។

នៅទីបញ្ចប់នៃប្រធានបទនេះ ខ្ញុំនឹងលើកភស្តុតាងពីរមកបង្ហាញ គឺការធ្វើសាក្សីរបស់ស្តេចអាណាចក្ររ៉ូមកាលសម័យបុរាណ ដែលស្តេចនេះឋិតក្នុងសម័យណាពីមូហាំម៉ាត់ និងសាក្សីអ្នកផ្សព្វផ្សាយសាសនាគ្រិស្តជនជាតិអង់គ្លេសសម័យបច្ចុប្បន្នគឺលោក ចនសាន់។

អ៊ីមុាំអាល់ពូខរីយ៍បានកត់ត្រាទាក់ទងនឹងដំណឹងរបស់អាពូស៊ហ្វយ៉ាន ខណៈដែលស្តេចអាណាចក្ររ៉ូម**ហេរីកឡា** បានអញ្ជើញគាត់ទៅជួប។ អាល់ពូខរីយ៍បាននិយាយថា :

حدثنا أبو اليمان الحكم بن نافع قال أخبرنا شعيب عن الزهري قال أخبرني عبيد الله بن عبد الله بن عتبة بن مسعود أن عبد الله بن عباس أخبره أن أبا سفيان بن حرب أخبره أن هرقل أرسل إليه في ركب من قريش وكانوا تجارا بالشأم في المدة التي كان رسول الله صلى الله عليه وسلم ماد فيها ابا سفيان وكفار قريش فأتوه وهم بإيلياء فدعاهم في مجلسه وحوله عظماء الروم ثم دعاهم ودعا بترجمانه فقال أيكم أقرب نسبا بهذا الرجل الذي يزعم أنه نبي ؟ فقال أبو سفيان فقلت أنا أقربهم نسبت فقال أدنوه مني وقربوا أصحابه فاجعلوهم عند ظهره ثم قال لترجمانه قل لهم إني سائل عن هذا الرجل فإن كذبني فكذبوه فوالله لولا الحياء من أن يأثروا علي كذبا لكذبت عنه . ثم كان أول ما سألني عنه أن قال كيف نسبه فيكم ؟ قلت هو فينا ذو نسب . قال فهل قال هذا القول منكم أحد قط قبله ؟ قلت لا . قال فهل كان من آبائه من ملك ؟ قلت لا . قال فأشراف الناس يتبعونه أم ضعفاؤهم ؟ فقلت بل ضعفاؤهم . قال أيزيدون أم ينقصون ؟ قلت بل يزيدون . قال فهل يرتد أحد منهم سخطة لدينه بعد أن يدخل فيه ؟ قلت لا . قال فهل كنتم تتهمونه بالكذب قبل أن يقول ما قال ؟ قلت لا . قال فهل يغدر ؟ قلت لا ونحن منه في مدة لا ندري ما هو فاعل فيها . قال ولم تمكني كلمة أدخل فيها شيئا غير هذه الكلمة . قال فهل قاتلتموه ؟ قلت نعم . قال فكيف كان قتالكم إياه ؟ قلت الحرب بيننا وبينه سجال ينال منا وننال منه . قال ماذا يأمركم ؟ قلت يقول اعبدوا الله وحده ولا تشركوا به شيء واتركوا ما يقول آباؤكم ويأمرنا بالصلاة والصدق والعفاف والصلة . فقال للترجمان قل له سألتك عن نسبه فذكرت أنه فيكم ذو نسب فكذلك الرسل تبعث

في نسب قومها . وسألتك هل قال أحد منكم هذا القول فذكرت أن لا فقلت لو كان أحد قال هذا القول قبله لقلت رجل يأتسي بقول قيل قبله . وسألتك هل كان من آبائه من ملك فذكرت أن لا قلت فلو كان من آبائه من ملك قلت رجل يطلب ملك أبيه . وسألتك هل كنتم تتهمونه بالكذب قبل أن يقول ما قال فذكرت أن لا فقد أعرف أنه لم يكن ليذر الكذب على الناس ويكذب على الله . وسألتك أشراف الناس اتبعوه أم ضعفاؤهم فذكرت أن ضعفاؤهم اتبعوه وهم أتباع الرسل وسألتك أيزيدون أم ينقصون فذكرت أنهم يزيدون وكذلك أمر الإيمان حتى يتم . وسألتك أيرتد أحد سخطة لدينه بعد أن يدخل فيه فذكرت أن لا وكذلك الإيمان حين تخالط بشاشته القلوب . وسألتك هل يغدر فذكرت أن لا وكذلك الرسل لا تغدر . وسألتك بما يأمركم فذكرت أنه يأمركم أن تعبدوا الله ولا تشركوا به شيئا وينهاكم عن عبادة الأوثان ويأمركم بالصلاة والصدق والعفاف فإن كان ما تقول حقا فسيملك موضع قدمي هاتين وقد كنت أعلم أنه خارج لم أكن أظن أنه منكم فلو أني أعلم حتى أخلص إليه لتجشمت لقاءه ولو كنت عنده لغسلت عن قدمه . ثم دعا بكتاب رسول الله صلى الله عليه وسلم الذي بعث به دحية إلى عظيم بصرى فدفعه إلى هرقل فقرأه فإذا فيه ( بسم الله الرحمن الرحيم من محمد عبد الله ورسوله إلى هرقل عظيم الروم سلام على من اتبع الهدى أما بعد فإني أدعوك بدعاية الإسلام أسلم تسلم يؤتك الله أجرك مرتين فإن توليت فإن عليك إثم الأريسيين و { يا أهل الكتاب تعالوا إلى كلمة سواء بيننا وبينكم أن لا نعبد إلا الله ولا نشرك به شيئا ولا يتخذ بعضنا بعضا أربابا من دون الله فإن تولوا فقولوا اشهدوا بأنا مسلمون } )

មានន័យថា ៖«*អាពូអាល់យ៉ាម៉ាន អាល់ហាកិម ពិនណាហ្វេក បាននិយាយប្រាប់យើងថា ស៊ូអែបប្រាប់យើងអំពីហ្សុះរីយ៏ ដែលបាននិយាយថា អូបៃទិលឡះ ពិន អាប់ឌុលឡោះ ពិន អុតប៉្ពះ ពិន ម៉ាសអូត និយាយថា អាប់ឌុលឡោះ ពិន អាប្ពើស បាននិយាយថា អាពូស័ហ្វយ៉ាន ពិន ហារ៉ប់ បានប្រាប់គាត់ថា ហេរីកឡា បានបញ្ជូនបេសកជនទៅហៅគាត់ឱ្យចូលគាល់ ខណៈដែលគាត់នៅជាមួយក្រុមឈ្មួញគូរ៉ស្សេ។ កាលនោះ ពួកគេជាឈ្មួញរកស៊ីនៅប្រទេសស្យាម ក្នុង*

អំឡុងពេលដែលណាពីមូហាំម៉ាត់ បានចរចារសន្តិភាពជាមួយអាពូស័ហ្វយ៉ាន និងពួកអារ៉ាប់គូរ៉ស្ស។ ពួកគេបានមកគាល់ស្តេចនោះនៅឯទីក្រុងមួយឈ្មោះអីលីយ៉ាក។ ស្តេចនោះត្រាស់បង្គាប់ឱ្យពួកគេចូលសវនាការ។ នៅជុំវិញព្រះអង្គមានមន្ត្រីកំពូល១។ ទ្រង់ត្រាស់បង្គាប់ឱ្យពួកគេហៅអ្នកបកប្រែចូលក្នុងសវនាការ រួចព្រះរាជាមានបន្ទូលសួរថា :« តើក្នុងចំណោមពួកគេ នរណាជាប់សាច់ឈាមជិតជាងគេជាមួយនឹងបុរសដែលអះអាងថា ខ្លួនគេជាណាពី?»។

អាពូស័ហ្វយ៉ាននិយាយថា :«គឺខ្ញុំ ជាអ្នកជាប់សាច់ឈាមជិតជាងគេ»។ ពេលនោះទ្រង់មានព្រះបន្ទូលថា :«ចូរឱ្យគេខិតមកជិតខ្ញុំ។ ចូរឱ្យក្រុមរបស់គេខិតមកជិត ហើយឈរពីក្រោយខ្នងគេ»។

ព្រះរាជាបានមានបន្ទូលទៅកាន់អ្នកបកប្រែថា :«ចូរប្រាប់គ្នារបស់គេថាខ្ញុំនឹងសួរបុរសនេះពីរឿងនោះ។ បើគេកុហកយើង ចូរប្រាប់យើងថាគេនិយាយកុហក»។ អាពូស័ហ្វយ៉ាននិយាយថា :«សូមស្បថចំពោះអល់ឡោះ បើសិនជាខ្ញុំមិនខ្លាចខ្មាសគេ នៅពេលពួកគេប្រាប់ថា ខ្ញុំនិយាយកុហកនោះ ខ្ញុំនឹងនិយាយកុហកអំពីមូហាំម៉ាត់»។ សំនួរដំបូងដែលគេសួរគឺ៖«តើពូជអំបូររបស់គេយ៉ាងម៉េចដែរក្នុងចំណោមពួកអ្នក?»។ ខ្ញុំប្រាប់ថា :«គេមានពូជអំបូរល្អ ត្រកូលខ្ពង់ខ្ពស់«។ គេសួរថា : «តើមាននរណាម្នាក់និយាយពាក្យនេះមុនរូបគេទេ?»។ ខ្ញុំប្រាប់ថា :« អត់មានទេ »។ គេសួរថា : «តើជីដូនជីតារបស់គេមានអ្នកណាធ្វើស្តេចទេ?»។ ខ្ញុំប្រាប់ថា :«អត់មានទេ»។ គេសួរខ្ញុំថា : «តើពួកអ្នកដើរតាមគេជាមនុស្សវណ្ណៈខ្ពង់ខ្ពស់ឬវណ្ណៈតូចទាប?»។ ខ្ញុំប្រាប់ថា :«គឺវណ្ណៈតូចទាប»

។ គេសួរថា ៖«តើពួកគេកើនឡើងឬថយចុះ?»។ ខ្ញុំប្រាប់ថា ៖« ពួកគេកើនឡើង»។ គេសួរថា ៖« តើមាននរណាបោះបង់សាសនារបស់គេបន្ទាប់ពីចូលរួចដោយសារការខឹងសម្បាទេ?»។ ខ្ញុំប្រាប់ថា ៖«ទេ»។ គេសួរថា ៖«តើអ្នកទាំងឡាយធ្លាប់ចោទប្រកាន់ថា គេជាមនុស្សបោកប្រាស់មុននឹងគេនិយាយពាក្យនេះចេញមកទេ?»។ ខ្ញុំប្រាប់ថា ៖«ទេ»។ គេសួរថា ៖«តើគេក្បត់នឹងកិច្ចសន្យាទេ?»។ ខ្ញុំប្រាប់ថា ៖ « ទេ! ហើយពួកយើងបានឃ្លាតពីគេមួយរយៈមិនដឹងថា គេធ្វើអ្វីទៀតនោះទេ»។ អាពូស៊ហ្វយ៉ាននិយាយថា ៖ «ខ្ញុំគ្មានពាក្យអ្វីអាចនិយាយពីបញ្ហានេះក្រៅពីពាក្យនេះឡើយ»។ គេ សួរថា ៖«តើពួកអ្នកធ្វើសង្គ្រាមជាមួយគេទេ?»។ ខ្ញុំឆ្លើយថា ៖«បាទធ្វើ»។ គេសួរថា ៖«តើសង្គ្រាមរបស់ពួកអ្នកជាមួយគេមានសភាពយ៉ាងណាដែរ?»។ ខ្ញុំប្រាប់ថា ៖ « សង្គ្រាមមានការឈ្នះចាញ់ម្នាក់ម្តង។ ម្តងគេឈ្នះយើង ម្តងយើងឈ្នះគេ»។ គេសួរថា ៖« តើគេប្រើពួកអ្នកឱ្យធ្វើអ្វី? »។ ខ្ញុំប្រាប់ថា ៖«គេនិយាយថា ចូរគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់។ ចូរកុំគោរពបូជាអ្វីផ្សេងរួមចំណែកជាមួយទ្រង់។ ចូរបោះបង់ចោលនូវអ្វីដែលជាកេរដូនតារបស់ពួកអ្នក។ គេប្រើឱ្យយើងថ្វាយបង្គំ បរិច្ចាគទ្រព្យ រក្សាខ្លួនមិនប្រព្រឹត្តអំពើអបាយមុខ និងរាប់អានសាច់ញាតិ»។ ស្តេចនោះបាននិយាយទៅកាន់អ្នកបកប្រែថា ៖«ខ្ញុំសួរអ្នកពីពូជអំបូររបស់គេ។ អ្នកប្រាប់ថា គេមានពូជអំបូរខ្ពង់ខ្ពស់»។ លក្ខណៈបែបនេះឯង ពួកអ្នកនាំសារទាំងឡាយដែលគេបញ្ជូនមកសុទ្ធតែមានពូជអំបូរខ្ពង់ខ្ពស់។ ខ្ញុំសួរអ្នកថា តើមាននរណានិយាយពាក្យនេះមុនគេទេ។ អ្នកប្រាប់ថា ទេ។ ខ្ញុំ

សូមប្រាប់ថា បើសិនជាមាននរណាម្នាក់និយាយពាក្យនេះមុនគេ នោះអ្នកនឹងនិយាយថា គេនិយាយតាមសម្ដីរបស់អ្នកដទៃ។ ខ្ញុំសួរអ្នកថា តើជីដូនជីតារបស់គេមានអ្នកធ្វើស្ដេចទេ។ អ្នកឆ្លើយថា ទេ។ សូមប្រាប់ថា បើសិនជាជីដូនជីតារបស់គេធ្វើស្ដេច ខ្ញុំអាចថា គេចង់ទាមទាររាជបល្ល័ង្កជីដូនជីតារបស់គេមកវិញ។ ខ្ញុំសួរអ្នកថា តើពួកអ្នកធ្លាប់ចោទគេថាជាមនុស្សបោកប្រាស់មុននឹងគេនិយាយពាក្យនេះទេ? អ្នកប្រាប់ថា ទេ។ ខ្ញុំដឹងថា គេមិនបន្ទល់ស្លាកស្នាមកុហកចំពោះមនុស្សលោកទេ ពីព្រោះវាបីដូចជាកុហកអល់ឡោះដែរ។ ខ្ញុំបានសួរអ្នកថា តើពួកអ្នកដើរតាមជាមនុស្សមានវណ្ណៈខ្ពង់ខ្ពស់ឬវណ្ណៈតូចទាប? អ្នកប្រាប់ថា ពួកអ្នកដើរតាមជាមនុស្សវណ្ណៈតូចទាប។ បែបនេះឯងពួកអ្នកដើរតាមពួកអ្នកនាំសារ។ ខ្ញុំសួរអ្នកថា តើពួកគេកើនឡើងឬថយចុះ? អ្នកប្រាប់ខ្ញុំថា ពួកគេកើនឡើង។ ដូច្នេះឯង រឿងរ៉ាវជំនឿគឺកើនឡើងរហូតដល់ពេញលក្ខណៈ។ ខ្ញុំសួរអ្នកថា តើមានអ្នកបោះបង់ក្រោយពេលចូលរួចដោយសារខឹងសម្បាទេ? អ្នកប្រាប់ថា ទេ។ បែបនេះឯងជំនឿ នៅពេលភាពរីករាយនៃជំនឿចូលជ្រាបដល់ក្នុងដួងចិត្ត។ ខ្ញុំសួរអ្នកថា តើគេក្បត់នឹងកិច្ចសន្យាទេ។ អ្នកប្រាប់ថា ទេ។ បែបនេះឯង ពួកអ្នកនាំសារមិនដែលក្បត់នឹងកិច្ចសន្យាទេ។ ខ្ញុំសួរអ្នកថា តើគេប្រើពួកអ្នកឱ្យធ្វើអ្វី? អ្នកប្រាប់ថា ប្រើឱ្យពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ មិនគោរពបូជាអ្វីរួមចំណែកជាមួយទ្រង់ ហាមពួកអ្នកពីការគោរពបូជារូបសំណាក។ គេប្រើពួកអ្នកឱ្យថ្វាយបង្គំព្រះ បរិច្ចាគទ្រព្យ រក្សាខ្លួនពីអំពើអបាយមុខ។ បើសិនជាអ្វីដែលអ្នកនិយាយនោះជាការពិត គឺគេនឹង

គ្រប់គ្រងកន្លែងដែលខ្ញុំកំពុងអង្គុយនេះ។ ខ្ញុំបានដឹងច្បាស់ថា រូបគេនឹងចេញមក។ ខ្ញុំមិននឹកស្មានថា គេចេញមកពីក្នុងចំណោមពួកអ្នកសោះ។ បើទោះជាខ្ញុំដឹងថា ការធ្វើដំណើរទៅរកគេមានឧបសគ្គ និងមានការលំបាកយ៉ាងណា ក៏ខ្ញុំនៅតែជម្នះគ្រប់ឧបសគ្គដើម្បីទៅជួបគេ។ បើសិនជាខ្ញុំនៅជាមួយគេ ខ្ញុំនឹងលាងបាទជើងឱ្យគេ។ បន្ទាប់មក ស្តេចហេរ៉ឹកឡាបានហៅឱ្យគេយកសាររបស់លោកមូហាំម៉ាត់ ដែលបានបញ្ជូនទៅជាមួយទះយ៉ះជូនថ្វាយស្តេចពុសរ៉ី ហើយស្តេចអង្គនេះបានបញ្ជូនសារទៅថ្វាយហេរ៉ឹកឡាវិញ។ ស្តេចនោះបានបើកសារអាន ក្នុងនោះមានសរសេរថា :« ក្នុងព្រះនាមអល់ឡោះ មហាមេត្តា មហាករុណា អំពីមូហាំម៉ាត់ជាខ្ញុំបម្រើ និងជាអ្នកនាំសាររបស់អល់ឡោះ ជូនចំពោះហេរ៉ឹកឡាស្តេចអាណាចក្ររ៉ូម(សូមសន្តិភាពកើតមាន ចំពោះអ្នកដើរតាមការចង្អុលបង្ហាញ)។ បន្ទាប់មកសូមអំពាវនាវលោកក្នុងនាមឥស្លាម។ សូមលោកមកចូលឥស្លាម គឺលោកនឹងទទួលបានសន្តិភាព។ អល់ឡោះនឹងប្រទានផលបុណ្យជូនលោកចំនួនពីរដង។ បើសិនជាលោកបដិសេធនោះ លោកនឹងទទួលផលបាបអំពីប្រជារាស្ត្ររបស់លោក។ ឱពួកម្ចាស់គម្ពីរទាំងឡាយ ចូរនាំគ្នាមករកពាក្យមួយម៉ាត់ដែលមានសមភាពរវាងពួកយើងនឹងពួកអ្នក គឺពួកយើងមិនគោរពសក្ការៈ លើកលែងតែចំពោះអល់ឡោះ។ ពួកយើងមិនគោរពបូជាអ្វីរួមជាមួយទ្រង់ ហើយពួកយើងមិនយកគ្នាឯងធ្វើជាព្រះក្រៅពីអល់ឡោះ។ បើសិនជាពួកអ្នកបែរខ្នងមិនព្រមទទួល ចូរធ្វើសាក្សីថា ពួកយើងគឺជាពួកអ្នកមូស្លីម»។

សាក្សីអ្នកផ្សព្វផ្សាយសាសនាគ្រិស្ត ជនជាតិអង់គ្លេសឈ្មោះ ចន សាន់ ដែលលោកបាននិយាយថាៈ«ក្រោយពេលអានយ៉ាងពិស្តារពីខ្លឹមសារឥស្លាម គោលការណ៍ឥស្លាមក្នុងការបម្រើដល់បុគ្គល និងសង្គម ភាពយុត្តិធម៌ក្នុងការកសាងសង្គមអាស្រ័យលើសមភាព និងជំនឿលើឯកទេវៈ។ ខ្ញុំឃើញថា ខ្លួនខ្ញុំកំពុងត្រូវជំរុញទៅរកឥស្លាមទាំងប្រាជ្ញាស្មារតី និងព្រលឹងវិញ្ញាណរបស់ខ្ញុំ។ ខ្ញុំបានស្បថសន្យាចំពោះអល់ឡោះថា ចាប់ពីថ្ងៃនេះតទៅ ខ្ញុំនឹងតាំងខ្លួនជាអ្នកផ្សព្វផ្សាយសាសនាឥស្លាម ផ្សព្វផ្សាយពីការចង្អុលបង្ហាញឥស្លាមនៅទូទាំងសកលលោក។

ពិតណាស់ គាត់បានឈានដល់សេចក្តីជឿនេះ បន្ទាប់ពីគាត់បានធ្វើការសិក្សាស្រាវជ្រាវអំពីសាសនាគ្រិស្តយ៉ាងស៊ីជម្រៅ។ គាត់បានរកឃើញថា សាសនានេះពុំបានឆ្លើយតបនឹងចម្ងល់របស់គាត់ជាច្រើន ដែលកើតមានក្នុងជីវិតរស់នៅរបស់មនុស្ស។ គាត់ចាប់ផ្តើមមានការសង្ស័យ បន្ទាប់មកគាត់បានសិក្សាស្រាវជ្រាវពីលទ្ធិកុំម៉ុយនីស និងសាសនាព្រះពុទ្ធ។ ក្នុងលទ្ធិទាំងពីរនេះ គាត់ពុំរកឃើញអ្វីដែលគាត់ចង់បាន។ បន្ទាប់មក គាត់បានសិក្សាស្រាវជ្រាវអំពីសាសនាឥស្លាមយ៉ាងស៊ីជម្រៅ។ គាត់មានការជឿជាក់ចំពោះសាសនានេះ ហើយបានធ្វើការផ្សព្វផ្សាយ និងអំពាវនាវមនុស្សឱ្យកាន់តាមសាសនានេះ។

# បញ្ចប់ការបញ្ជូនអ្នកនាំសារ

ការបកស្រាយខាងលើ បង្ហាញពីសច្ចភាពនៃការបញ្ជូនពួកណាពី សញ្ញាភស្តុតាង និងអំណះអំណាងបញ្ជាក់ពីភាពក្លាយជាណាពីរបស់មូហាំម៉ាត់។ មុននឹងនិយាយអំពីបញ្ហាបញ្ចប់ការបញ្ជូនអ្នកនាំសារ ចាំបាច់ត្រូវដឹងថា អល់ឡោះជាម្ចាស់ទ្រង់ពុំបានបញ្ជូនអ្នកនាំសារមកទេលុះត្រាតែក្នុងបុព្វហេតុណាមួយដូចខាងក្រោមៈ

១. ជាសារដែលគេបញ្ជូនមកជាពិសេសសម្រាប់ជាតិសាសន៍ណាមួយ។ គេមិនបង្គាប់អ្នកនាំសារនោះឱ្យផ្សព្វផ្សាយសារនេះទៅកាន់ជាតិសាសន៍ដទៃដែលនៅជាប់កៀ្បរខាងគ្នាទេ។ ដូច្នេះ ទ្រង់នឹងបញ្ជូនអ្នកនាំសារផ្សេងទៀតជាពិសេសសម្រាប់ជាតិសាសន៍ផ្សេងទៀត។

២. សាសនាដែលណាពីមុនៗបាននាំមកនោះ ត្រូវគេបោះបង់ចោល លែងមានអ្នកសិក្សារៀនសូត្រ។ ដូច្នេះ អល់ឡោះទ្រង់បញ្ជូនណាពីម្នាក់ទៀត ដើម្បីបង្រៀនមនុស្សសាឡើងវិញអំពីសាសនារបស់ពួកគេ។

៣. ក្បួនច្បាប់ដែលណាពីមុននាំមកមានសុពលភាពសម្រាប់តែមនុស្សជំនាន់គាត់ មិនសក្តិសមសម្រាប់សម័យក្រោយទេ។ ដូច្នេះ អល់ឡោះជាម្ចាស់បញ្ជូនអ្នកនាំសារផ្សេងទៀតនាំសារ និងក្បួនច្បាប់ដែលសក្តិសមនឹងសម័យកាល និងទីកន្លែងនោះ។ ពិតណាស់គតិបណ្ឌិតរបស់អល់ឡោះជាម្ចាស់ តម្រូវឱ្យណាពីមូហាំម៉ាត់នាំសារមួយដែលសម្រាប់មនុស្សទូទៅក្នុងសកលលោកប្រកាន់តាម មានសុពលភាពសម្រាប់គ្រប់សម័យកាល និងគ្រប់ទីកន្លែង។ ទ្រង់អភិរក្សការពារមិនឱ្យមាន

បាទដែកខ្វក់ណាមួយមកលួចផ្លាស់ប្តូរ កែប្រែសាសនានេះឡើយ។ ក្នុងបំណងរក្សាសារនេះឱ្យនៅគង់វង្សស្ថិតស្ថេរសម្រាប់រៀបចំជីវិតរស់នៅរបស់មនុស្សជ្រះស្អាតពីកម្អែលនៃការផ្លាស់ប្តូរ និងការកែប្រែ។ ហេតុដូច្នេះ ទើបអល់ឡោះជាម្ចាស់ទ្រង់ចាត់ទុកសារនេះ ជាសារចុងក្រោយបង្អស់។

លក្ខណៈពិសេសដែលអល់ឡោះជាម្ចាស់ទ្រង់បានប្រទានចំពោះមូហាំម៉ាត់ គឺលោកជាណាពីចុងក្រោយបង្អស់ គ្មានណាពីថ្មីបន្ទាប់ពីគាត់។ ព្រោះអល់ឡោះជាម្ចាស់ទ្រង់បញ្ចប់សារទាំងឡាយ បញ្ចប់ការបញ្ញត្តិច្បាប់ និងបញ្ចប់ការបញ្ជូនណាពីត្រឹមសម័យកាលរបស់លោក។ ភាពក្លាយជាណាពីរបស់លោកបាននិមិត្តឡើងយ៉ាងជាក់ស្តែងដោយដំណឹងល្អអំពីយេស៊ូដែលនិយាយថា : « តើពួកអ្នកពិតជាមិនបានអានសោះទេឬថា ក្នុងគម្ពីរទាំងឡាយ ដុំថ្មដែលពួកជាងបានបដិសេធមិនព្រមសាងសង់នោះ គឺសសរគ្រឹះនៅត្រង់ជ្រុងនោះ»។ សង្ឃគ្រិស្តសាសនាម្នាក់ឈ្មោះ អ៊ីព្រហ៊ីមអាល់ខលីល ដែលក្រោយមកលោកបានចូលឥស្លាម លោកបាននិយាយថា អត្ថបទនេះស្របជាមួយនឹងប្រសាសន៍របស់ណាពីមូហាំម៉ាត់ដែលបានរៀបរាប់អំពីខ្លួនឯងថា :

**عن أبي هريرة رضي الله عنه أن رسول الله صلى الله عليه وسلم قال ( إن مثلي مثل الأنبياء من قبلي كمثل رجل بنى بيتا فأحسنه وأجمله إلا موضع لبنة من زاوية فجعل الناس يطوفون به ويعجبون له ويقولون هلا وضعت هذه اللبنة ؟ قال فأنا اللبنة وأنا خاتم النبيين ) صحيح البخاري.**

មានន័យថា : « *រូបខ្ញុំប្រៀបជាមួយនឹងពួកណាពីមុនៗ ដូចជាបុរសម្នាក់សាងសង់ផ្ទះមួយ។ គេបានតុបតែងយ៉ាងល្អប្រណីត លើកលែងតែ*

*កន្លែងការ៉ូមួយនៅត្រង់ជ្រុងខាងនោះពុំទាន់បានរៀប។ មនុស្សទាំងឡាយដើរមើល នាំគ្នាស្ញើចសរសើរទាំងអស់គ្នា ហើយនាំគ្នានិយាយថា ហេតុអ្វីបានជាគេមិនរៀបការ៉ូនៅត្រង់នោះ? គាត់បានមានប្រសាសន៍ថា :« ខ្ញុំជាការ៉ូនោះ ហើយខ្ញុំជាណាពីចុងក្រោយបង្អស់»។*

ហេតុដូច្នេះ ទើបអល់ឡោះជាម្ចាស់បានប្រទានគម្ពីរមកឱ្យណាពីមូហាំម៉ាត់ ជាគម្ពីរមួយដែលគ្របដណ្តប់លើគម្ពីរសម័យមុន។ គេចាត់ទុកគម្ពីរមុនៗជាមោឃៈ ហើយក្បួនច្បាប់ក្នុងគម្ពីរនេះលុបចោលនូវក្បួនច្បាប់គម្ពីរមុនៗ។ អល់ឡោះជាម្ចាស់ទ្រង់ធានាអភិរក្សសាសនានេះ ហើយត្រូវបានគេផ្ទេរឱ្យគ្នាជាបន្តបន្ទាប់។ គម្ពីរអាល់គួរអានត្រូវបានផ្ទេរឱ្យគ្នាជាបន្តបន្ទាប់ទាំងសម្លេង និងតួអក្សរ ដូចជាគេបានផ្ទេរធម្មបដិបត្តិនិយមរបស់គាត់ទាំងពាក្យសម្តី និងការប្រតិបត្តិ គឺជាការផ្ទេរឱ្យគ្នាបន្តបន្ទាប់តាមលំដាប់លំដោយ។ ម៉្យាងទៀតការផ្ទេររបៀបនៃកាប្រតិបត្តិក្បួនច្បាប់ ការគោរពប្រតិបត្តិ ធម្មបដិបត្តិនិយម និងច្បាប់បញ្ញត្តិផ្សេងៗ នៃសាសនានេះ គឺជាការផ្ទេរឱ្យជាបន្តបន្ទាប់តាមលំដាប់លំដោយ។

ចំពោះអ្នកដែលបានអានកំណត់ត្រាជីវប្រវត្តិ និងធម្មបដិបត្តិនិយមរបស់ណាពីមូហាំម៉ាត់នឹងបានដឹងថា ពួកសហការីរបស់គាត់បានរក្សាសម្រាប់មនុស្សជាតិនូវគ្រប់ស្ថានភាពទាំងអស់នៃការរស់នៅរបស់ណាពីមូហាំម៉ាត់ទាំងពាក្យសម្តី និងការប្រព្រឹត្តរបស់គាត់។ ពួកគេបានចម្លងការគោរពប្រតិបត្តិ ការតស៊ូ និងការសូត្រធម៌របស់គាត់រំឭកដល់អល់ឡោះជាម្ចាស់ និងសុំអភ័យទោសពីទ្រង់។ បង្ហាញពីទឹកចិត្ត

សប្បុរស សេចក្ដីក្លាហាន ការរស់នៅប្រចាំថ្ងៃជាមួយនឹងពួកសហការីរបស់គាត់ និងពួកប្រតិភូដែលមកជួបគាត់។ ពួកគេបានចម្លងទុកផងដែរអំពីភាពសប្បាយរីករាយ និងការកើតទុក្ខរបស់គាត់។ ការធ្វើដំណើរ និងការស្នាក់នៅផ្ទះរបស់គាត់ របៀបហូបចុក ការស្លៀកពាក់ ការចូលគេង និងការងើបពីគេងរបស់គាត់។ បើសិនជាអ្នកដឹងពីរឿងរ៉ាវទាំងនេះ អ្នកនឹងជឿជាក់ថា សាសនានេះអល់ឡោះជាម្ចាស់បានអភិរក្ស និងថែរក្សាឱ្យនៅគង់វង្ស ហើយអ្នកនឹងដឹងទៀតថា គាត់គឺជាណាពី និងជាអ្នកនាំសារចុងក្រោយបង្អស់។ ពីព្រោះអល់ឡោះជាម្ចាស់បានមានព្រះបន្ទូលប្រាប់យើងអំពីអ្នកនាំសារចុងក្រោយបង្អស់នេះថា :

﴿ مَّا كَانَ مُحَمَّدٌ أَبَآ أَحَدٍ مِّن رِّجَالِكُمْ وَلَٰكِن رَّسُولَ ٱللَّهِ وَخَاتَمَ ٱلنَّبِيِّـۧنَ ﴾ سورة الأحزاب: ٤٠

មានន័យថា : «*មូហាំម៉ាត់ពុំមែនជាឪពុករបស់បុរសណាម្នាក់ក្នុងចំណោមពួកអ្នក។ ក៏ប៉ុន្តែគេជាអ្នកនាំសាររបស់អល់ឡោះ និងជាណាពីចុងក្រោយបង្អស់*»។

ណាពីមូហាំម៉ាត់បានមានប្រសាសន៍អំពីខ្លួនរបស់គាត់ថា :

**عن أبي هريرة أن رسول الله صلى الله عليه وسلم قال : (وأرسلت إلى الخلق كافة وختم بي النبيون ) صحيح مسلم.**

មានន័យថា : «*គេបញ្ជូនខ្ញុំទៅកាន់មនុស្សលោកទូទៅ ហើយគេបញ្ចប់ការបញ្ជូនពួកណាពីត្រឹមរូបខ្ញុំ*»។

ឥឡូវនេះជាពេលត្រូវពន្យល់បកស្រាយពីអត្ថន័យ ប្រភព មូលដ្ឋានគ្រឹះ និងឋានានុក្រម នៃសាសនាឥស្លាម។

## ពន្យល់ពាក្យឥស្លាម

បើសិនជាអ្នកអានសាឡើងវិញនៅក្នុងវចនានុក្រមភាសាផ្សេងៗ អ្នកនឹងដឹងថា ពាក្យថា «ឥស្លាម» មានន័យថា : ការស្តាប់បង្គាប់ ការព្រមចុះចូល ការគោរពប្រណិប័តន៍ ការប្រគល់ខ្លួន ការអនុវត្តតាមការបង្គាប់ និងការហាមឃាត់ដោយគ្មានការប្រកែកជំទាស់។ ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានឱ្យឈ្មោះសាសនាដ៏មានសច្ចភាពនេះថា «ឥស្លាម»។ ពីព្រោះឥស្លាម គឺជាសាសនាដែលគោរពប្រណិប័តន៍អល់ឡោះ អនុវត្តតាមបទបញ្ជារបស់ទ្រង់ដោយគ្មានការប្រកែកជំទាស់។ គោរពសក្ការៈចំពោះទ្រង់ ដោយសេចក្តីជ្រះថ្លា ជឿជាក់ចំពោះដំណឹងរបស់ទ្រង់ និងមានជំនឿចំពោះទ្រង់។ ឈ្មោះឥស្លាមបានក្លាយជាបញ្ញត្តិសម្គាល់សម្រាប់សាសនាដែលអ្នកនាំសារឈ្មោះ «មូហាំម៉ាត់»។

## អត្ថន័យនៃឥស្លាម

ហេតុអ្វីបានជាគេឱ្យឈ្មោះសាសនានេះថា«ឥស្លាម»? ពិតណាស់ សាសនាផ្សេងៗនៅលើភពផែនដីទាំងមូល បានបញ្ញត្តិហៅឈ្មោះផ្សេងៗគ្នា។ ជួនកាលហៅតាមឈ្មោះរបស់បុគ្គលពិសេស ឬជនជាតិណាមួយដូចជា សាសនាគ្រិស្តយកឈ្មោះមកពីពាក្យឈើឆ្កាង សាសនាព្រះពុទ្ធហៅតាមឈ្មោះអ្នកស្ថាបនិកសាសនានេះគឺព្រះពុទ្ធសមណគោត្តម។ សាសនាហ្សារ៉ាដេសទី គេល្បីហៅឈ្មោះនេះ ពីព្រោះអ្នកដែលបង្កើតគឺឈ្មោះ ហ្សារ៉ាដេសត៍។ ដូចគ្នាដែរ សាសនាជ្វីហ្វបានកើតឡើងក្នុងចំណោមកុលសម្ព័ន្ធអ៊ីស្រាអែលមួយឈ្មោះថា«យ៉ាហូហ្សា» ហើយ

គេក៏នាំគ្នាហៅសាសនានេះថាយ៉ាហូទីយ៍។ល។ លើកលែងតែសាសនាឥស្លាម ពុំបានសន្មតហៅតាមឈ្មោះបុគ្គលណាម្នាក់ទេ ហើយក៏មិនសន្មតហៅតាមជនជាតិណាមួយដែរ។ ឈ្មោះនេះបញ្ជាក់ពីលក្ខណៈពិសេសរបស់ខ្លួន ដែលមានខ្លឹមសារក្តោបរួមក្នុងពាក្យឥស្លាមនេះតែម្តង។ អត្ថន័យដែលស្តែងឡើងចេញពីឈ្មោះនេះ ពុំទាក់ទងនឹងការបង្កើតរបស់បុគ្គលណាម្នាក់ ហើយក៏មិនចំពោះជនជាតិណាមួយកំណត់ដែរ។ តាមពិត គោលដៅរបស់សាសនាឥស្លាម គឺចង់ឱ្យមនុស្សទាំងអស់នៅលើភពផែនដីនេះប្រកាន់យកជាលក្ខណៈឥស្លាម។ ដូច្នេះ អ្នកណាក៏ដោយ ឱ្យតែមានលក្ខណៈសម្បត្តិនេះ ទោះជាពីអតីតកាលឬពេលបច្ចុប្បន្នយ៉ាងណាក៏ដោយគឺគេជាមូស្លីម។ ម៉្យាងទៀត ចំពោះអ្នកដែលនឹងកាន់តាមសាសនានេះ នៅពេលអនាគតក៏នឹងក្លាយជាមូស្លីមដូចគ្នាដែរ។



## ធាតុពិតនៃឥស្លាម

ជាទូទៅ អ្វីៗគ្រប់យ៉ាងនៅក្នុងលោកនេះ គោរពទៅតាមក្បួនច្បាប់ជាក់លាក់ និងគោរពតាមក្រឹត្យក្រមកំណត់មួយ។ ព្រះអាទិត្យ ព្រះចន្ទ្រ ផ្កាយ ផែនដី គោរពតាមក្បួនច្បាប់ តាមឋានានុក្រម។ សភាវៈទាំងនេះមិនអាចចាកឆ្ងាយពីក្រឹត្យក្រមទាំងនេះ សូម្បីតែប៉ុនមួយសរសៃសក់។ ដូចគ្នាដែរមនុស្ស បើសិនជាគេពិនិត្យពិចារណាលើខ្លួនឯង គេនឹងឃើញច្បាស់ថា ខ្លួនគេក៏គោរពតាមក្រឹត្យក្រមរបស់អល់ឡោះយ៉ាងពេញលក្ខណៈ។ ខ្លួនគេមិនដកដង្ហើម មិនមានអារម្មណ៍

ស្រែកទឹក ឃ្លានចំណីអាហារ ត្រូវការពន្លឺ និងកម្ដៅ លើកលែងតែស្របតាមក្រឹត្យក្រមកំណត់របស់ព្រះជាម្ចាស់ដែលទ្រង់បានរៀបចំសម្រាប់ជីវិតរស់នៅរបស់គេ។ ម៉្យាងវិញទៀត អវយវៈខ្លួនប្រាណរបស់គេទាំងមូលក៏ស្ដាប់បង្គាប់តាមក្រឹត្យក្រមនេះផងដែរ។ គ្រប់កិច្ចការទាំងឡាយដែលអវយវៈ ខ្លួនប្រាណធ្វើចលនា គឺជាការប្រតិបត្តិអ្វីដែលអល់ឡោះជាម្ចាស់បានសម្រេច។

ក្រឹត្យក្រមកំណត់នេះគ្រប់លក្ខណៈ ដែលចាំបាច់ត្រូវតែគោរពតាមនៅក្នុងលោកនេះ មិនអាចប្រកែកបានឡើយ រាប់បញ្ចូលទាំងភពផ្កាយដ៏ធំបំផុត រហូតដល់អាតូមដ៏តូចបំផុតនៅលើផែនដី។ នេះគឺជាការកំណត់របស់ព្រះជាម្ចាស់ដែលមានអំណាច និងអានុភាពខ្លាំងក្លា។ បើសិនជាអ្វីគ្រប់យ៉ាងនៅលើមេឃទាំងប្រាំពីរជាន់ នៅលើផែនដី និងអ្វីៗដែលនៅចន្លោះភពទាំងពីរគោរពតាមក្រឹត្យក្រមនេះ ពិតណាស់ពិភពលោកទាំងមូលស្ដាប់បង្គាប់តាមព្រះជាម្ចាស់ដ៏មានអំណាចដែលទ្រង់បានកំណត់ឡើង ហើយប្រតិបត្តិតាមការបង្គាប់របស់ទ្រង់។ យោងតាមខ្លឹមសារនេះ បង្ហាញឱ្យឃើញថា ឥស្លាមគឺជាសាសនាសម្រាប់ចក្រវាលទាំងមូល ពីព្រោះឥស្លាមមានន័យថា :« ការស្ដាប់បង្គាប់ ការព្រមចុះចូល ការគោរពប្រតិបត្តិតាមបទបញ្ជា និងការហាមឃាត់របស់ទ្រង់ដោយគ្មានការប្រកែកជំទាស់» ដូចដែលអ្នកបានជ្រាបពីខាងដើមស្រាប់។ ព្រះអាទិត្យ ព្រះចន្ទ្រ ផែនដីស្ដាប់បង្គាប់តាមទ្រង់។ ខ្យល់ ទឹក ពន្លឺ ភាពងងឹត និងកម្ដៅស្ដាប់បង្គាប់តាមទ្រង់។ ដើមឈើ ថ្ម សត្វពាហនៈស្ដាប់បង្គាប់តាមទ្រង់។ សូម្បីតែមនុស្សលោកដែលមិន

ស្គាល់ព្រះជាម្ចាស់របស់ខ្លួន ប្រកែកមិនព្រមជឿចំពោះទ្រង់ បដិសេធចំពោះសញ្ញាភស្តុតាងរបស់ទ្រង់ ឬគោរពបូជាអ្នកផ្សេងក្រៅពីទ្រង់ គោរពពហុទេពរួមជាមួយទ្រង់ ក៏ខ្លួនគេនៅតែស្តាប់បង្គាប់តាមទ្រង់ដោយសភាវគតិរបស់គេដែលទ្រង់បានបង្កើតមក។

បើសិនជាអ្នកបានយល់ពីបញ្ហានេះ ចូរនាំគ្នាពិនិត្យសង្កេតលើបញ្ហារបស់មនុស្សយើងវិញម្តង។ យើងនឹងឃើញថា មនុស្សលោកកំពុងប្រឈមនឹងបញ្ហាប្រទាញប្រទង់ចំនួនពីរគឺៈ

ទី១. និស្ស័យពីកំណើតដែលអល់ឡោះជាម្ចាស់ ទ្រង់បានបង្កើតមនុស្សក្នុងនិស្ស័យនេះគឺការស្តាប់បង្គាប់ ព្រមចុះចូលចំពោះអល់ឡោះ។ ការស្រលាញ់ពេញចិត្តនឹងការគោរពសក្ការៈចំពោះទ្រង់ បូជាចំពោះទ្រង់។ ម្យ៉ាងទៀត ស្រលាញ់នូវអ្វីដែលអល់ឡោះជាម្ចាស់ទ្រង់សព្វព្រះទ័យនៃសច្ចភាព កុសលធម៌ និងភាពស្មោះត្រង់។ លើសពីនេះគេស្អប់ខ្ពើមចំពោះអ្វីដែលអល់ឡោះជាម្ចាស់ ទ្រង់មិនសព្វព្រះទ័យដូចជាអំពើអសច្ចភាព អំពើអកុសល អំពើឧក្រិដ្ឋ និងអំពើអយុត្តិធម៌។ អ្វីៗដែលជាប់ពាក់ព័ន្ធនឹងនិស្ស័យនេះដូចជា ការស្រលាញ់ទ្រព្យសម្បត្តិ ស្រលាញ់គ្រួសារ ប្រពន្ធកូន ចំណង់ចំណូលចិត្តម្ហូបអាហារ និងការរៀបការមានគ្រួសារ។ ការងារផ្សេងៗទៀតដែលទាមទារឱ្យអវយវៈនៃខ្លួនប្រាណធ្វើចលនាតាមតួនាទីរបស់ខ្លួន។

ទីពីរ. បំណងប្រាថ្នា និងជម្រើសរបស់មនុស្ស។ ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនពួកអ្នកនាំសារ ហើយទ្រង់បានប្រទានព្រះគម្ពីរចុះមក ដើម្បីវែកញែករវាងសច្ចភាព និងអសច្ចភាព បែង

ចែករវាងការចង្អុលបង្ហាញ និងការវង្វេង ល្អនិងអាក្រក់។ ទ្រង់បានប្រទានបន្ថែមទៀតនូវបញ្ញា និងការយល់ដឹងដើម្បីឱ្យមនុស្សមានចក្ខុវិស័យយល់ច្បាស់ពីជម្រើសរបស់ខ្លួន។ បើសិនជាគេចង់ជ្រើសរើសផ្លូវល្អ គឺគេដើរផ្លូវល្អ។ ជាផ្លូវដែលនាំគេឆ្ពោះទៅរកសច្ចភាពនិងការចង្អុលបង្ហាញ។ បើសិនជាគេចង់ជ្រើសរើសផ្លូវអាក្រក់គឺគេដើរផ្លូវអាក្រក់។ ផ្លូវនេះនឹងនាំគេឆ្ពោះទៅរកអំពើអាក្រក់ និងការវិនាសមហន្តរាយ។

បើសិនជាអ្នកក្រឡេកមើលទៅមនុស្សលោកដោយប្រការទីមួយ អ្នកនឹងឃើញថា ពួកមនុស្សកើតមកត្រូវបង្ខំឱ្យទទួលយក។ កើតមកចាំបាច់ត្រូវតែគោរពតាមគ្មានទីគេចវេស ដូចសត្វលោកដទៃទៀត។

បើសិនជាយើងក្រឡេកមើលប្រការទីពីរវិញ យើងឃើញថាមនុស្សមានសិទ្ធិជ្រើសរើសតាមបំណងប្រាថ្នារបស់គេ។ ចង់ក្លាយជាអ្នកមូស្លីមឬជាអ្នកគ្មានជំនឿ។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿إِمَّا شَاكِرًا وَإِمَّا كَفُورًا ۝٣﴾ سورة الإنسان: ٣

មានន័យថា :«*គេអាចក្លាយជាអ្នកដឹងគុណ និងអាចក្លាយជាអ្នករមិលគុណ*»។

ហេតុដូច្នេះ ទើបអ្នកប្រទះឃើញមនុស្សមានពីរប្រភេទះ

មនុស្សប្រភេទទី១ ជាមនុស្សដែលស្គាល់ព្រះជាម្ចាស់ ទ្រង់ជាអ្នកបង្កើតរូបគេ។ មានជំនឿចំពោះព្រះជាម្ចាស់ ទ្រង់ជាស្តេច ជាព្រះតែមួយគត់ ដែលគេត្រូវគោរពបូជា។ ប្រតិបត្តិច្បាប់បញ្ញត្តិរបស់ទ្រង់ក្នុងពិភពជីវិតនៃជម្រើសរបស់គេ។ ព្រះជាម្ចាស់បានបង្កើតគេមកក្នុងនិស្ស័យដែលគោរពប្រតិបត្តិតាមព្រះរបស់ខ្លួន ដោយគ្មានការងាករេ

ប្រតិបត្តិតាមការកំណត់របស់ទ្រង់។ នេះ គឺជាលក្ខណៈរបស់អ្នកមូស្លីម ដ៏ពេញលក្ខណៈ ជួយបំពេញបន្ថែមដល់ការចូលឥស្លាមរបស់គេ។ ពិតណាស់ ចំណេះដឹងរបស់គេក្លាយជាសុក្រឹតត្រឹមត្រូវ ពីព្រោះគេស្គាល់អល់ឡោះជាម្ចាស់ ជាអ្នកបង្កើតរូបគេដែលទ្រង់បានបញ្ជូនពួកអ្នកនាំសារ ហើយទ្រង់បានប្រទានដល់គេនូវសមត្ថភាពចំណេះដឹង និងការសិក្សារៀនសូត្រ។ គេបានក្លាយជាមនុស្សដែលមានបញ្ញាសុក្រឹត និងគំនិតត្រឹមត្រូវ។ ពីព្រោះខ្លួនគេបានបញ្ជ្រាបចំណេះដឹងដល់គំនិតរបស់គេ ហើយសម្រេចចិត្តថា គេមិនគោរពបូជាលើកលែងតែចំពោះអល់ឡោះជាម្ចាស់តែមួយគត់ ដែលទ្រង់បានប្រទានដល់គេនូវទេពកោសល្យនៃការយល់ និងមានថ្វីគំនិតទាក់ទងនឹងបញ្ហាផ្សេងៗ។ សម្ដីរបស់គេក្លាយជាត្រឹមត្រូវ ពោលពាក្យពិត ពីព្រោះឥឡូវនេះ គេមិនទទួលស្គាល់ម្ចាស់ណាផ្សេងក្រៅពីម្ចាស់តែមួយគត់គឺអល់ឡោះ។ ទ្រង់បានប្រទានដល់រូបគេនូវសមត្ថភាព សម្ដី និងការនិយាយ។ ជីវិតរបស់គេហាក់បីដូចជាគ្មានសល់អ្វីក្រៅពីភាពទៀងត្រង់នោះឡើយ។ ពីព្រោះរាល់ជម្រើសរបស់គេ គឺគោរពតាមច្បាប់បញ្ញត្តិរបស់អល់ឡោះ។ រវាងរូបគេ និងសត្វលោកទាំងឡាយ គឺបានចងមេត្រីភាពនឹងគ្នា។ ពីព្រោះគេពុំបានគោរពបូជា លើកលែងតែចំពោះអល់ឡោះដែលប្រកបដោយគតិបណ្ឌិត ទ្រង់មហាសព្វញ្ញូ។ ទ្រង់ជាព្រះដែលមានសត្វលោកទាំងឡាយស្តាប់បង្គាប់ តាមក្រឹត្យក្រមកំណត់របស់ទ្រង់ ហើយទ្រង់បានបង្កើតអ្វីៗទាំងអស់ជាផលប្រយោជន៍សម្រាប់មនុស្សលោក។

# ធាតុពិតនៃភាពគ្មានជំនឿ

ផ្ទុយពីមនុស្សប្រភេទទី១គឺ នៅមានមនុស្សមួយប្រភេទទៀត កើតមកចេះស្តាប់បង្គាប់ ហើយជីវិតរស់នៅរបស់គេស្តាប់បង្គាប់តាមក្រឹត្យក្រមកំណត់របស់ព្រះ។ តែរូបគេមិនដឹងថា ខ្លួនឯងស្តាប់បង្គាប់ឬមិនយល់ពីរឿងនេះ និងមិនស្គាល់ព្រះជាម្ចាស់របស់ខ្លួនតែម្តង។ រូបគេមិនមានជំនឿចំពោះច្បាប់បញ្ញត្តិរបស់ទ្រង់ មិនប្រតិបត្តិតាមពួកអ្នកនាំសាររបស់ទ្រង់។ រូបគេពុំបានប្រើចំណេះដឹង និងបញ្ញាដែលអល់ឡោះជាម្ចាស់បានប្រទានដល់រូបគេនោះ ដើម្បីស្វែងយល់ពីអ្នកដែលបានបង្កើតរូបគេ បង្កើតឱ្យគេមានត្រចៀកស្តាប់ មានភ្នែកសម្រាប់មើល។ មិនតែប៉ុណ្ណោះ គេបែរជាប្រកែកមិនព្រមជឿថា មានព្រះ។ គេក្រអឺតក្រទមមិនព្រមគោរពបូជាចំពោះទ្រង់។ បដិសេធមិនព្រមគោរពប្រតិបត្តិតាមច្បាប់បញ្ញត្តិរបស់អល់ឡោះ ដែលទ្រង់បានប្រទានដល់គេនូវការប្រតិបត្តិ និងជម្រើសដ៏ត្រឹមត្រូវនៃកាតព្វកិច្ចផ្សេងៗក្នុងជីវិតរបស់គេ ឬគេគោរពពហុទេពរួមជាមួយនឹងទ្រង់។ រូបគេបដិសេធមិនព្រមជឿចំពោះសញ្ញាភស្តុតាងទាំងឡាយដែលបញ្ជាក់ពីភាពជាព្រះជាម្ចាស់តែមួយគត់របស់ទ្រង់។ មនុស្សដែលមានលក្ខណៈបែបនេះ គឺជាមនុស្សដែលគ្មានជំនឿ។ គ្មានជំនឿពាក្យអារ៉ាប់ហៅថា «គូហ្វ្ហរ (الكفر)» មានន័យថា : បិទបាំង ឬគ្រប។ ដូចជាគេនិយាយថា : (كفر درعه بثوبه) មានន័យថា : គេពាក់អាវគ្របពីលើអាវក្រោះរបស់គេ។ ដូចគ្នាដែរ បុគ្គលកាហ្វៀរ គឺជាបុគ្គលដែលបានបិទបាំងនិស្ស័យពីកំណើតរបស់គេដោយភាពអវិជ្ជា និងភាពល្ងង់ខ្លៅ។ អ្នកដឹងច្បាស់ថាមនុស្សកើតមក

ក្នុងនិស្ស័យឥស្លាម ហើយអវយវៈខ្លួនប្រាណរបស់គេមិនដំណើរការ លើកលែងតែតាមនិស្ស័យឥស្លាម។ ពិភពលោកទាំងមូលកំពុងដំណើរការនៅជុំវិញខ្លួនរបស់គេ គឺដំណើរការតាមក្រឹត្យក្រមនៃការស្តាប់បង្គាប់។ ក៏ប៉ុន្តែមនុស្សបានប្រើរបាំងនៃភាពអវិជ្ជា និងភាពល្ងង់ខ្លៅបាំងគ្របលើចក្ខុវិស័យដែលជានិស្ស័យធម្មជាតិ និងនិស្ស័យរបស់ខ្លួនឯង។ អ្នកឃើញថា រូបគេមិនប្រើកម្លាំង គំនិត និងចំណេះដឹង ដើម្បីធ្វើអ្វីក្រៅការប្រឆាំងនឹងនិស្ស័យពីកំណើតរបស់ខ្លួនឯងនោះឡើយ។ គេគ្មានយល់ឃើញអ្វីក្រៅពីការយល់ផ្ទុយពីនិស្ស័យនេះ និងគ្មានការស្វែងរកអ្វីក្រៅពីការរារាំងនិស្ស័យនេះឡើយ។

ឥឡូវនេះអ្នកអាចវាយតម្លៃដោយខ្លួនឯងនូវអ្វីដែលពួកអ្នកគ្មានជំនឿកំពុងដើរថយក្រោយ ទាក់ទងនឹងការវង្វេងប្រាសចាកពីសច្ចភាព និងអំពើអយុត្តិធម៌ដ៏ច្បាស់លាស់។



សាសនាឥស្លាមទាមទារឱ្យអ្នកអនុវត្តនូវកិច្ចការដែលមិនពិបាក។ វាជាកិច្ចការដែលងាយស្រួលសម្រាប់អ្នក ដែលអល់ឡោះប្រទានភាពងាយស្រួលដល់រូបគេ។ ឥស្លាម គឺជាអ្វីដែលនៅក្នុងចក្រវាលទាំងមូលកំពុងដំណើរការ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَهُۥٓ أَسۡلَمَ مَن فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ طَوۡعٗا وَكَرۡهٗا ﴾ سورة آل عمران: ٨٣

មានន័យថា :«*អ្វីៗដែលនៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើផែនដីបានចុះចូលជាមួយទ្រង់។ ជាការចុះចូលដោយស្ម័គ្រចិត្ត និងដោយបង្ខំចិត្ត*»។

ឥស្លាមជាសាសនារបស់អល់ឡោះ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ إِنَّ ٱلدِّينَ عِندَ ٱللَّهِ ٱلۡإِسۡلَٰمُ ﴾ سورة آل عمران: ١٩

មានន័យថា ៖ *«ពិតណាស់ សាសនាដែលអល់ឡោះជាម្ចាស់ទ្រង់ទទួលស្គាល់គឺសាសនាឥស្លាម»។*

ឥស្លាមគឺជាការប្រគល់ខ្លួនជូនអល់ឡោះជាម្ចាស់។ ទ្រង់បានមានព្រះបន្ទូលថា ៖ «អ្វីៗដែលនៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើផែនដីបានចុះចូលជាមួយទ្រង់»។

﴿ فَإِنۡ حَآجُّوكَ فَقُلۡ أَسۡلَمۡتُ وَجۡهِيَ لِلَّهِ وَمَنِ ٱتَّبَعَنِ ﴾ سورة آل عمران: ٢٠

មានន័យថា ៖ *«នែមូហាំម៉ាត់! បើសិនជាពួកម្ចាស់គម្ពីរប្រកែកជំទាស់ជាមួយអ្នក អំពីរឿងជំនឿឯកទេវៈ បន្ទាប់ពីអ្នកបានលើកភស្តុតាងបង្ហាញដល់ពួកគេ។ ចូរប្រាប់ពួកគេថា ខ្ញុំមានសទ្ធាជ្រះថ្លាចំពោះអល់ឡោះតែមួយគត់។ ខ្ញុំមិនគោរពពហុទេពរួមជាមួយនឹងទ្រង់ឡើយ។ ក៏ដូចគ្នាដែរ ពួកអ្នកមានជំនឿដែលប្រតិបត្តិតាមខ្ញុំ»។*

ប្រាកដណាស់ ណាពីមូហាំម៉ាត់បានបកស្រាយអំពីអត្ថន័យនៃឥស្លាម លោកបានមានប្រសាសន៍ថា ៖

**قال النبي صلى الله عليه وسلم : ( أن تسلم قلبك لله وأن توجه وجهك لله وأن تصلي الصلاة المكتوبة وتؤدي الزكاة المفروضة) صحيح ابن حبان**

មានន័យថា ៖ *«អ្នកត្រូវប្រគល់ចិត្តរបស់អ្នកជូនអល់ឡោះជាម្ចាស់ បែរមុខទៅរកអល់ឡោះ(មានសទ្ធាជ្រះថ្លាចំពោះអល់ឡោះ) ថ្វាយបង្គំដែលគេបានកំណត់ជាកាតព្វកិច្ច និងបរិច្ចាគទ្រព្យតាមកាតព្វកិច្ចដែលគេបានកំណត់»។*

មានបុរសម្នាក់មកសួរអ្នកនាំសាររបស់អល់ឡោះថា តើឥស្លាមជាអ្វី? គាត់មានប្រសាសន៍ ថា :« ដួងចិត្តរបស់អ្នកប្រគល់ជូនអល់ឡោះ ធ្វើឱ្យអ្នកមូស្លីមមានសុវត្ថិភាពពីការបៀតបៀនតាម រយៈសម្តី និងដៃជើងរបស់អ្នក»។ គេសួរថា :« តើអ្វីដែលប្រសើរជាងគេនៅក្នុងឥស្លាម? គាត់បានតបវិញថា :«ជំនឿ»។ គេសួរថា :«តើជំនឿជាអ្វី?»។ គាត់បានតបវិញថា :«អ្នកត្រូវតែមានជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ និងមានជំនឿចំពោះការរស់ឡើងវិញបន្ទាប់ពីស្លាប់»។ មូហាំម៉ាត់ដែលជាអ្នកនាំសារបានមានប្រសាសន៍ថា :

**فقال رسول الله صلى الله عليه وسلم : ( الإسلام أن تشهد أن لا إله إلا الله وأن محمدا رسول الله صلى الله عليه وسلم وتقيم الصلاة وتؤتي الزكاة وتصوم رمضان وتحج البيت إن استطعت إليه سبيلا ) صحيح مسلم**

មានន័យថា : *«ឥស្លាម គឺត្រូវសច្ចាថា គ្មានព្រះជាម្ចាស់ដែលត្រូវគោរពសក្ការៈយ៉ាងពិតប្រាកដ លើកលែងតែអល់ឡោះ ហើយសច្ចាថា មូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ។ អ្នកត្រូវប្រតិបត្តិការថ្វាយបង្គំ បរិច្ចាគទ្រព្យ បួសខែរ៉ម៉ាហ្ទន ធ្វើធម្មយាត្រានៅវិហារកាក់ហ្ពះ បើសិនជាអ្នកមានលទ្ធភាពធ្វើដំណើរ»។*

អ្នកនាំសាររបស់អល់ឡោះបានមានប្រសាសន៍ទៀតថា :

**قال النبي صلى الله عليه وسلم : ( المسلم من سلم المسلمون من لسانه ويده ) صحيح البخاري**

មានន័យថា : *«អ្នកមូស្លីម គឺជាអ្នកដែលធ្វើឱ្យអ្នកមូស្លីមទាំងឡាយមានសុវត្ថិភាពពីការបៀតបៀនតាមរយៈពាក្យសម្តី និងដៃរបស់គេ»។*

ឥស្លាម គឺជាសាសនាដែលអល់ឡោះជាម្ចាស់ទ្រង់ទទួលស្គាល់។ ទ្រង់មិនទទួលស្គាល់សាសនាដទៃរបស់ពួកមនុស្សជំនាន់មុន និងជំនាន់ក្រោយ។ ពិតណាស់ ពួកណាពីទាំងអស់កាន់តាមសាសនាឥស្លាម។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَٱتۡلُ عَلَيۡهِمۡ نَبَأَ نُوحٍ إِذۡ قَالَ لِقَوۡمِهِۦ يَٰقَوۡمِ إِن كَانَ كَبُرَ عَلَيۡكُم مَّقَامِي وَتَذۡكِيرِي بِـَٔايَٰتِ ٱللَّهِ فَعَلَى ٱللَّهِ تَوَكَّلۡتُ ﴾ سورة يونس: ٧١

មានន័យថា ៖ *មូហាំម៉ាត់! ចូរអ្នកនិទានរឿងណាពីណួស និងសាសន៍របស់គេប្រាប់ពួកអ្នកគ្មានជំនឿនៅម៉ាក្កះ។ ចូរអ្នករំឭកចុះ ខណៈដែលណួសបាននិយាយទៅកាន់សាសន៍របស់គេថា ៖ «នែសាសន៍របស់ខ្ញុំ! បើសិនជាការស្នាក់នៅរបស់ខ្ញុំ និងការដាស់តឿនរំឭករបស់ខ្ញុំចំពោះពួកអ្នក ដោយបង្ហាញប្រាប់ពួកអ្នកអំពីអំណះអំណាង និងភស្តុតាងរបស់ អល់ឡោះ វាធ្វើឱ្យពិបាកដល់ពួកអ្នកនោះ ដូច្នេះរូបខ្ញុំរំពឹងនិងទុកចិត្តចំពោះអល់ឡោះតែមួយគត់។*

នៅក្នុងបន្ទូលរបស់អល់ឡោះថា ៖

﴿ وَأُمِرۡتُ أَنۡ أَكُونَ مِنَ ٱلۡمُسۡلِمِينَ ٧٢ ﴾ سورة يونس: ٧٢

មានន័យថា ៖ *«គេបង្គាប់ខ្ញុំឱ្យក្លាយជាអ្នកដែលគោរពប្រតិបត្តិតាមច្បាប់បញ្ញត្តិរបស់ទ្រង់»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីណាពីអ៊ីព្រហ៊ីមថា ៖

﴿ إِذۡ قَالَ لَهُۥ رَبُّهُۥٓ أَسۡلِمۡۖ قَالَ أَسۡلَمۡتُ لِرَبِّ ٱلۡعَٰلَمِينَ ١٣١ ﴾ سورة البقرة: ١٣١

មានន័យថា ៖ *«ចូរអ្នករំឭកចុះ ខណៈដែលព្រះជាម្ចាស់បានមានព្រះបន្ទូលទៅកាន់គេថា ៖«ចូរប្រគល់ខ្លួនជូនម្ចាស់របស់ឯង» ។ គេតបទៅ*

*ព្រះជាម្ចាស់វិញថា : « ខ្ញុំព្រមប្រគល់ខ្លួនជូនព្រះជាម្ចាស់នៃសកលលោកទាំងមូល»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៅកាន់ណាពីមូសាថា :

﴿ وَقَالَ مُوسَىٰ يَٰقَوۡمِ إِن كُنتُمۡ ءَامَنتُم بِٱللَّهِ فَعَلَيۡهِ تَوَكَّلُوٓاْ إِن كُنتُم مُّسۡلِمِينَ ﴿٨٤﴾ ﴾ سورة يونس: ٨٤

មានន័យថា : *មូសាបាននិយាយថា :«នែសាសន៍របស់ខ្ញុំ! បើសិនជាពួកអ្នកមានជំនឿចំពោះអល់ឡោះ ចូរអ្នកវំពឹងជឿទុកចិត្តចំពោះអល់ឡោះ បើសិនជាពួកអ្នកជាអ្នកមូស្លីម»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទាក់ទងនឹងដំណឹងរបស់យេស៊ូថា :

﴿ وَإِذۡ أَوۡحَيۡتُ إِلَى ٱلۡحَوَارِيِّـۧنَ أَنۡ ءَامِنُواْ بِي وَبِرَسُولِي قَالُوٓاْ ءَامَنَّا وَٱشۡهَدۡ بِأَنَّنَا مُسۡلِمُونَ ﴿١١١﴾ ﴾ سورة المائدة: ١١١

មានន័យថា :«*ចូរអ្នករំឭកពីពរជ័យរបស់យើងចំពោះអ្នក ខណៈដែលយើងបានត្រាស់បន្ទូលទៅកាន់ពួកសាវ័ករបស់អ្នកឱ្យពួកគេមានជំនឿចំពោះឯកទេវភាពរបស់អល់ឡោះ និងភាពក្លាយជាណាពីរបស់អ្នក។ ពួកគេនិយាយថា ពួកយើងមានជំនឿ ហើយចូរអ្នកធ្វើសាក្សីថា ពួកយើងជាអ្នកមូស្លីម»។*

សាសនាឥស្លាម ដកស្រង់ច្បាប់បញ្ញត្តិ គោលជំនឿ និងក្បួនច្បាប់ផ្សេងៗចេញពីការត្រាស់បន្ទូលរបស់អល់ឡោះ គឺគម្ពីរអាល់គួរអាន និងធម្មបដិបត្តិនិយមរបស់ណាពីមូហាំម៉ាត់។ ខ្ញុំសូមសង្ខេបអំពីគម្ពីរអាល់គួរអាន និងធម្មបដិបត្តិនិយមត្រឹមនេះ។

# ឫសគល់និងប្រភពនៃឥស្លាម

ទម្លាប់របស់ពួកអ្នកកាន់សាសនាផ្សេង និងលទ្ធិដែលគេបង្កើតឡើង គឺពួកគេនាំគ្នាគោរពលើកតម្កើងគម្ពីរដែលជាមរតកក្នុងសាសនារបស់ពួកគេ។ គម្ពីរនេះ គេបានសរសេរចងក្រងតាំងពីសម័យបុរាណ។ ជួនកាលមិនដឹងថា នរណាជាអ្នកនិពន្ធពិតប្រាកដ។ មិនដឹងថា នរណាជាអ្នកបកប្រែ។ មិនដឹងថា គេបាននិពន្ធនៅឆ្នាំណានោះឡើយ។ គម្ពីរទាំងនោះសរសេរដោយមនុស្សមួយក្រុមដែលមានលក្ខណៈសម្បត្តិទន់ខ្សោយ ខ្វះខាត មានមហិច្ឆតាលោភលន់ និងការភ្លេចភ្លាំងដូចមនុស្សទូទៅផងដែរ។

ចំណែកឯសាសនាឥស្លាមវិញមានលក្ខណៈពិសេសខុសពីសាសនាដទៃ ដោយផ្អែកលើប្រភពពិតប្រាកដ(ការត្រាស់បន្ទូលរបស់ព្រះ)គម្ពីរអាល់គួរអាននិងចម្មបដិបត្តិនិយមរបស់ណាពីមូហាំម៉ាត់។ តទៅនេះខ្ញុំសូមធ្វើការពន្យល់ណែនាំដោយសង្ខេបអំពីប្រភពទាំងពីរដូចតទៅៈ

**ក.គម្ពីរអាល់គួរអាន** អ្នកបានជ្រាបរួចមកហើយថា ឥស្លាមគឺជាសាសនារបស់អល់ឡោះ។ ហេតុដូច្នេះ អល់ឡោះទ្រង់បានប្រទានគម្ពីរអាល់គួរអានដល់អ្នកនាំសារ(មូហាំម៉ាត់)របស់ទ្រង់ ជាការចង្អុលបង្ហាញសម្រាប់ពួកអ្នកដែលកោតខ្លាច។ គម្ពីរនេះជាច្បាប់ធម្មនុញ្ញសម្រាប់ពួកអ្នកមូស្លីម ជាថ្នាំសម្រាប់ព្យាបាលដួងចិត្តពួកអ្នកដែលទ្រង់ប្រាថ្នាចង់សព្វព្រះទ័យឱ្យគម្ពីរនេះក្លាយជាថ្នាំព្យាបាលសម្រាប់ពួកគេ។ ម៉្យាងទៀត ជាប្រទីបសម្រាប់ពួកអ្នកដែលអល់ឡោះប្រាថ្នាចង់ឱ្យពួកគេទទួលបាននូវភាពជោគជ័យ និងពន្លឺរស្មី។ គម្ពីរនេះ គ្របដណ្តប់លើ

ឬសគល់ដែលអល់ឡោះជាម្ចាស់ទ្រង់បានតែងតាំងពួកអ្នកនាំសារ។ គម្ពីរអាល់គួរអានពុំមែនជាច្បាប់ដែលប្រឌិតចេញគម្ពីរផ្សេងៗឡើយ។ ណាពីមូហាំម៉ាត់ក៏ពុំមែនជាអ្នកនាំសារបង្កើតថ្មីចេញពីពួកអ្នកនាំសារទាំងនោះដែរ។ ពិតណាស់ អល់ឡោះជាម្ចាស់បានប្រទានគម្ពីរស៊ូហុហ្វដល់អ៊ីព្រហ៊ីម ទ្រង់ប្រទានគម្ពីរតាវរ៉ាតដល់មូសា ទ្រង់បានប្រទានគម្ពីរហ្សាពួរដល់ដាវូត ទ្រង់បានប្រទានគម្ពីរអិញ្ជីលដល់ម៉ាស៊ី(យេស៊ូ)។ គម្ពីរទាំងនេះគឺជាការត្រាស់បន្ទូលរបស់អល់ឡោះ ទៅកាន់ពួកណាពីនិងពួកអ្នកនាំសាររបស់ទ្រង់។ ប៉ុន្តែគម្ពីរដែលបានលើកឡើងខាងលើបានបាត់បង់ភាគច្រើន គេលែងយកមកសិក្សារៀនសូត្រ ហើយមានការកែប្រែ និងផ្លាស់ប្តូរទៀតផង។

រីឯគម្ពីរអាល់គួរអានវិញអល់ឡោះជាម្ចាស់ទ្រង់ធានារក្សាការពារ ហើយទ្រង់ចាត់ទុកជាគម្ពីរដែលគ្របដណ្តប់លើគម្ពីរទាំងឡាយ និងលុបចោលគម្ពីរមុនៗ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَأَنزَلْنَآ إِلَيْكَ ٱلْكِتَٰبَ بِٱلْحَقِّ مُصَدِّقًا لِّمَا بَيْنَ يَدَيْهِ مِنَ ٱلْكِتَٰبِ وَمُهَيْمِنًا عَلَيْهِ ﴾

سورة المائدة: ٤٨

មានន័យថា : *«នែមូហាំម៉ាត់! យើងបានប្រទានគម្ពីរនេះដល់ឯងដោយសច្ចភាព ជាសាក្សីបញ្ជាក់ពីភាពត្រឹមត្រូវរបស់គម្ពីរមុនៗ។ គម្ពីរនេះ គឺមកអំពីអល់ឡោះ បញ្ជាក់អំពីការកែប្រែទាំងឡាយ ហើយលុបចោលនូវច្បាប់មួយចំនួនដែលមានក្នុងគម្ពីរមុនៗ»*។

អល់ឡោះបានរៀបរាប់ប្រាប់ពីគម្ពីរនេះថា ជាគម្ពីរដែលបកស្រាយយ៉ាងពិស្តារអំពីអ្វីគ្រប់យ៉ាង។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَنَزَّلۡنَا عَلَيۡكَ ٱلۡكِتَٰبَ تِبۡيَٰنٗا لِّكُلِّ شَيۡءٖ ﴾ سورة النحل: ٨٩

មានន័យថា : *«ពិតណាស់ យើងបានប្រទានគម្ពីរមួយច្បាប់ដល់ឯង ដែលបកស្រាយយ៉ាងពិស្តារពីអ្វីៗគ្រប់យ៉ាង»។*

គម្ពីរនេះជាការចង្អុលបង្ហាញនិងជាក្តីមេត្តា។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ فَقَدۡ جَآءَكُم بَيِّنَةٞ مِّن رَّبِّكُمۡ وَهُدٗى وَرَحۡمَةٞۚ ﴿١٥٧﴾ ﴾ سورة الأنعام: ١٥٧

មានន័យថា : *«ពិតណាស់ ការចង្អុលបង្ហាញ និងការមេត្តាករុណាមកអំពីព្រះជាម្ចាស់របស់ពួកអ្នក»។*

គម្ពីរនេះចង្អុលបង្ហាញមនុស្សទៅរកអ្វីដែលសុក្រឹតបំផុត។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّ هَٰذَا ٱلۡقُرۡءَانَ يَهۡدِي لِلَّتِي هِيَ أَقۡوَمُ ﴾ سورة الإسراء: ٩

មានន័យថា : *«ពិតណាស់ គម្ពីរអាល់គួរអានចង្អុលបង្ហាញទៅរកអ្វីដែលសុក្រឹតបំផុត»។*

គម្ពីរនេះចង្អុលបង្ហាញមនុស្សទៅរកផ្លូវដែលសុក្រឹតបំផុតសម្រាប់គ្រប់កិច្ចការទាំងអស់ក្នុងជីវិតរស់នៅរបស់ពួកគេ។

គម្ពីរអាល់គួរអានជានិមិត្តសញ្ញាអមតៈសម្រាប់ណាពីមូហាំម៉ាត់ មានចែងអំពីសញ្ញាភស្តុតាងដែលអមតៈមិនសាបសូន្យរហូតដល់ថ្ងៃបរលោក។ ពិតណាស់ សញ្ញាភស្តុតាង និងអច្ឆរិយភាពរបស់ពួកណាពីមុនៗផុតរលត់ទៅ នៅពេលដែលពួកគាត់ស្លាប់លាចាកលោកយើងនេះ។ ចំណែកគម្ពីរអាល់គួរអានវិញទ្រង់បានរក្សាជាសញ្ញាភស្តុតាងដ៏អមតៈ។

គម្ពីរអាល់គួរអានជាភស្តុតាងដ៏កំពូល និងជានិមិត្តិសញ្ញដ៏អស្ចារ្យ ដែលអល់ឡោះបានដាក់កំហិតចំពោះមនុស្សលោកឱ្យពួកគេនិពន្ធ ឱ្យដូច ឬនិពន្ធឱ្យបាន១០ជំពូកដូចនឹងគម្ពីរនេះ ឬនិពន្ធឱ្យបាន១ជំពូក ដូចនឹងជំពូកណាមួយក្នុងគម្ពីរនេះ។ ពួកគេអសមត្ថភាព ដ្បិត សម្ព័ន្ធ ល្បះនៃគម្ពីរនេះកើតចេញពីតួអក្សរ និងពាក្យនីមួយផ្សំចូលគ្នា។ ម៉្យាង ទៀត ជាតិសាសន៍ដែលគេបានបញ្ចុះគម្ពីរនេះគឺជាតិសាសន៍ដែលពូកែ ខាងវោហារសាស្ត្រ និងវចីកោសល្យ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَمۡ يَقُولُونَ ٱفۡتَرَىٰهُۖ قُلۡ فَأۡتُواْ بِسُورَةٖ مِّثۡلِهِۦ وَٱدۡعُواْ مَنِ ٱسۡتَطَعۡتُم مِّن دُونِ ٱللَّهِ إِن كُنتُمۡ صَٰدِقِينَ ٣٨ ﴾ سورة يونس: ٣٨

មានន័យថា : *«ឬក៏ពួកគេនិយាយថា គម្ពីរនេះមូហាំម៉ាត់ប្រឌិតឡើង ដោយខ្លួនឯង? មូហាំម៉ាត់ ចូរមានប្រសាសន៍ថា សូមនិពន្ធឱ្យបានមួយ ជំពូកដូចនឹងគម្ពីរអាល់គួរអាន។ សូមពួកអ្នកអំពាវនាវហៅពួកអ្នក ដែលមានសមត្ថភាពក្រៅពីអល់ឡោះ ទាំងមនុស្ស និងបង់បត់សហ ការគ្នាធ្វើ បើសិនជាការអះអាងរបស់ពួកអ្នកត្រឹមត្រូវមែននោះ»។*

សាក្សីរបស់គម្ពីរអាល់គួរអានគឺ គម្ពីរនេះជាការត្រាស់បន្ទូលមក អំពីអល់ឡោះ។ ក្នុងគម្ពីរនេះ ពោរពេញដោយដំណឹងជាច្រើនស្ដីអំពី មនុស្សជំនាន់មុន។ ម៉្យាងទៀតគម្ពីរនេះ ប្រាប់អំពីព្រឹត្តិការណ៍អនាគត ដែលបានកើតឡើងជាក់ស្ដែងដូចការប្រាប់នោះមែន។ មានចែងអំពី ចំណេះដឹងផ្នែកវិទ្យាសាស្ត្រជាច្រើនដែលវិទ្យាសាស្ត្រខ្លះ និងពួកអ្នក សិក្សាស្រាវជ្រាវ មិនទាន់រកឃើញ លើកលែងតែនៅសម័យបច្ចុប្បន្ន នេះប៉ុណ្ណោះ។ ជាសាក្សីរបស់គម្ពីរអាល់គួរអានដែរ គឺគម្ពីរនេះជាការ

ត្រាស់បន្ទូលអំពីអល់ឡោះជាម្ចាស់ប្រទានដល់ណាពីមូហាំម៉ាត់ ដែលមុននឹងគាត់ទទួលគម្ពីរនេះ គេមិនដែលដឹងថា គាត់ធ្លាប់ដឹងរឿងនេះ និងមិនដែលនិទានទាក់ទងនឹងរឿងនេះទាល់តែសោះ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ قُل لَّوۡ شَآءَ ٱللَّهُ مَا تَلَوۡتُهُۥ عَلَيۡكُمۡ وَلَآ أَدۡرَىٰكُم بِهِۦۖ فَقَدۡ لَبِثۡتُ فِيكُمۡ عُمُرٗا مِّن قَبۡلِهِۦٓۚ أَفَلَا تَعۡقِلُونَ ١٦ ﴾ سورة يونس: ١٦

មានន័យថា ៖ «*មូហាំម៉ាត់! ចូរអ្នកមានប្រសាសន៍ថា ៖«បើសិនជាអល់ឡោះសព្វព្រះទ័យមិនចង់ឱ្យខ្ញុំចេះសូត្រ គឺខ្ញុំមិនចេះសូត្រគម្ពីរនេះឱ្យពួកអ្នកស្តាប់ទេ។ ពិតណាស់ ខ្ញុំបានរស់នៅជាមួយពួកអ្នកអស់ពេលរាប់សិបឆ្នាំមុននឹងខ្ញុំទទួលការត្រាស់បន្ទូលនេះ។ តើពួកអ្នកដែលត្រិះរិពិចារណារឿងនេះទេ?*»។

តាមពិត មូហាំម៉ាត់ គឺជាអនក្ខរជនម្នាក់។ គាត់មិនចេះអាន មិនចេះសរសេរ។ គាត់មិនដែលអង្គុយរៀនពីមនុស្សចាស់ណាម្នាក់ ឬរៀនជាមួយគ្រូអាចារ្យណាម្នាក់ឡើយ។ ជាមួយនោះគាត់បានដាក់កំហិតចំពោះពួកកវី និងអ្នកមានវោហារសាស្រ្តទាំងឡាយឱ្យនិពន្ធ ដូចនឹងអ្វីដែលគាត់បាននាំមក។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَمَا كُنتَ تَتۡلُواْ مِن قَبۡلِهِۦ مِن كِتَٰبٖ وَلَا تَخُطُّهُۥ بِيَمِينِكَۖ إِذٗا لَّٱرۡتَابَ ٱلۡمُبۡطِلُونَ ٤٨ ﴾
سورة العنكبوت: ٤٨

មានន័យថា ៖ «*ពីដើមមកមុននឹងគេបញ្ចុះគម្ពីរអាល់គួរអានដល់ឱ្យឯង ឯងពុំធ្លាប់អាននិងសរសេរអក្សរនឹងដៃស្តាំរបស់ឯងទេ។ បើសិនជាឯង*

*ធ្លាប់អាននិងធ្លាប់សរសេរមែន ពួកអ្នកបដិសេធទាំងនោះច្បាស់ជានឹងសង្ស័យចំពោះឯងជាមិនខាន»។*

បុរសអនក្ខរជនដែលគេបានពិពណ៌នាពីលក្ខណៈរបស់គាត់ក្នុងគម្ពីរតាវរ៉ត និងអិញ្ជីលថា គាត់គឺជាអនក្ខរជន មិនចេះអានមិនចេះសរសេរ។ ពួកបព្វជិតសាសនាគ្រិស្ត និងសាសនាជ្វីហ្វបានមកជួបគាត់ គឺពួកអ្នកដែលមានសេសសល់ក្បួនច្បាប់ខ្លះៗក្នុងគម្ពីរតាវរ៉តនិងអិញ្ជីល។ ពួកគេសួរគាត់អំពីរឿងរ៉ាវដែលពួកគេខ្វែងយោបល់គ្នា ហើយពួកគេសុំឱ្យគាត់កាត់ក្តីចំពោះអ្វីដែលពួកគេខ្វែងយោបល់គ្នា។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលបញ្ជាក់ពីដំណឹងរបស់គាត់ ក្នុងគម្ពីរតាវរ៉ត និងអិញ្ជីលថា :

﴿ ٱلَّذِينَ يَتَّبِعُونَ ٱلرَّسُولَ ٱلنَّبِيَّ ٱلْأُمِّيَّ ٱلَّذِي يَجِدُونَهُۥ مَكْتُوبًا عِندَهُمْ فِي ٱلتَّوْرَىٰةِ وَٱلْإِنجِيلِ يَأْمُرُهُم بِٱلْمَعْرُوفِ وَيَنْهَىٰهُمْ عَنِ ٱلْمُنكَرِ وَيُحِلُّ لَهُمُ ٱلطَّيِّبَٰتِ وَيُحَرِّمُ عَلَيْهِمُ ٱلْخَبَٰٓئِثَ ﴾ سورة الأعراف: ١٥٧

មានន័យថា :«*ពួកអ្នកដើរតាមអ្នកនាំសារជាណាពីអនក្ខរជនម្នាក់ដែលពួកគេប្រទះឃើញមានសរសេរក្នុងគម្ពីរតាវរ៉ត និងអិញ្ជីល។ អ្នកនាំសារម្នាក់នេះ ប្រើឱ្យពួកគេធ្វើល្អ និងហាមឃាត់ពួកគេពីអំពើអាក្រក់។ គេបានអនុញ្ញាតចំណីហាឡាល់សម្រាប់ពួកគេ ហើយបានហាមឃាត់ចំពោះពួកគេនូវចំណីដែលមិនស្អាតមានមេរោគ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَيَسْـَٔلُونَكَ عَنِ ٱلرُّوحِ ﴾ سورة الإسراء: ٨٥

មានន័យថា : *«ពួកគេសួរអ្នកអំពីព្រលឹង»។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ وَيَسْـَٔلُونَكَ عَن ذِى ٱلْقَرْنَيْنِ ﴾ سورة الكهف: ٨٣

មានន័យថា : *«ពួកគេសួរអ្នកអំពីស្តេចហ្សុលកើរណៃន(ស្តេចអាឡិចសង់)»។*

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ إِنَّ هَـٰذَا ٱلْقُرْءَانَ يَقُصُّ عَلَىٰ بَنِىٓ إِسْرَٰٓءِيلَ أَكْثَرَ ٱلَّذِى هُمْ فِيهِ يَخْتَلِفُونَ ﴿٧٦﴾ ﴾ سورة النمل: ٧٦

មានន័យថា : *«ពិតណាស់ គម្ពីរអាល់គួរអាននិទានប្រាប់ពួកអំបូរអ៊ីស្រាអែលអំពីរឿងរ៉ាវភាគច្រើនដែលពួកគេខ្វែងយោបល់គ្នា»។*

មានបព្វជិតគ្រិស្តសាសនាម្នាក់ឈ្មោះអាប្រាហាំហ្វីលីប បានព្យាយាមសរសេរនិក្ខេបបទមួយដើម្បីបង្ហូចកិត្យានុភាពគម្ពីរអាល់គួរអាន ។ តែគាត់បែរអសមត្ថភាព គាត់ធ្វើមិនកើត ហើយគម្ពីរអាល់គួរអានរួមជាមួយភស្តុតាង និងអំណះអំណាងរបស់ខ្លួនបានបង្ខំឱ្យរូបគាត់ប្រកាសចុះចាញ់ទទួលស្គាល់ពីការអសមត្ថភាពរបស់ខ្លួន។ គាត់បានទទួលស្គាល់ព្រះជាម្ចាស់ដែលបានបង្កើតគាត់ ហើយបានប្រកាសខ្លួនចូលឥស្លាម។

នៅពេលដែលអ្នកឥស្លាមម្នាក់បានជូនគម្ពីរអាល់គួរអានបកប្រែមួយច្បាប់ដល់លោកដេហ្វរីយ៍ឡាញ ជាបណ្ឌិតជនជាតិអាមេរិក។ គាត់បានរកឃើញថា គម្ពីរអាល់គួរអាននិយាយទៅកាន់ខ្លួនរបស់គាត់ ហើយឆ្លើយតបនឹងចម្ងល់របស់គាត់។ លុបបំបាត់រនាំងដែលខណ្ឌចែករវាងគាត់នឹងខ្លួនឯង។ គាត់បាននិយាយទៀតថា : « ពិតណាស់ គម្ពីរអា

ល់គួរអានដែលអល់ឡោះបានបញ្ចុះមកនេះ ហាក់បីដូចជាស្គាល់ខ្លួនរបស់ខ្ញុំច្បាស់ជាងខ្ញុំស្គាល់ខ្លួនឯង»។ ហេតុអ្វីមិនអាច? ព្រោះអ្នកដែលបានប្រទានគម្ពីរអាល់គួរអានចុះមក គឺជាអ្នកដែលបានបង្កើតមនុស្ស។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَلَا يَعْلَمُ مَنْ خَلَقَ وَهُوَ ٱللَّطِيفُ ٱلْخَبِيرُ ﴿١٤﴾ ﴾ سورة الملك: ١٤

មានន័យថា : *«តើព្រះដែលបានបង្កើត ទ្រង់មិនដឹងល្អិតល្អន់ពីសត្វលោករបស់ទ្រង់ទេឬ?»*។

ដោយសារការអានគម្ពីរអាល់គួរអានបកប្រែនេះ ទើបគាត់បានចូលសាសនាឥស្លាម។ លោកបាននិពន្ធសៀវភៅដែលខ្ញុំបានដកស្រង់យកមកបង្ហាញបន្តិចខាងលើនេះ។

គម្ពីរអាល់គួរអានមានអ្វីៗគ្រប់យ៉ាង ដែលមនុស្សលោកត្រូវការ។ គម្ពីរនេះមានចែងអំពីឫសគល់ផ្នែកទ្រឹស្ដី និងគោលជំនឿ ក្បួនច្បាប់ទំនាក់ទំនង និងក្រមសីលធម៌។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ مَّا فَرَّطْنَا فِي ٱلْكِتَٰبِ مِن شَيْءٍ ﴾ سورة الأنعام: ٣٨

មានន័យថា : *«នៅក្នុងបញ្ជីព្រះលិខិត យើងបានកត់ត្រាទុកទាំងអស់ដោយពុំបានទុកចោលអ្វីមួយឡើយ»*។

ក្នុងគម្ពីរនេះមានការអំពាវនាវទៅរកជំនឿឯកទេវៈចំពោះអល់ឡោះជាម្ចាស់តែមួយគត់។ ទ្រង់បានមានព្រះបន្ទូលស្ដីអំពីព្រះនាម ព្រះលក្ខណៈសម្បត្តិ និងទង្វើរបស់ទ្រង់។ ទ្រង់អំពាវនាវទៅរកសុចរិតភាពដែលពួកណាពី និងពួកអ្នកនាំសារបាននាំមក។ ទ្រង់បានបញ្ជាក់ពីថ្ងៃរស់ឡើងវិញ ការតបស្នង ការជំនុំជម្រះ។ ទ្រង់បានលើកភស្តុតាង

និងអំណះអំណាងបញ្ជាក់ពីរឿងនេះ។ ទ្រង់បានមានព្រះបន្ទូលប្រាប់ពីដំណឹងរបស់មនុស្សជំនាន់មុន និងទណ្ឌកម្មដែលពួកគេបានជួប ហើយទទួលរងក្នុងលោកនេះ ព្រមទាំងទារុណកម្មដែលកំពុងតែរង់ចាំពួកគេនៅថ្ងៃបរលោក។

ក្នុងគម្ពីរនេះដែរមាននិមិត្តសញ្ញា ភស្តុតាង និងអំណះអំណាងជាច្រើនដែលធ្វើឱ្យពួកអ្នកប្រាជ្ញមានការភ្ញាក់ផ្អើល។ គម្ពីរនេះមានសុពលភាពសម្រាប់គ្រប់សម័យកាល។ ពួកអ្នកប្រាជ្ញបានសិក្សាស្រាវជ្រាវឃើញក្នុងគម្ពីរនេះនូវប្រធានបទជាច្រើន។ ខ្ញុំនឹងលើកឧទាហរណ៍ចំនួនបីដែលបង្ហាញពីរបកគំហើញនោះ ហើយឧទាហរណ៍ទាំងបីនេះមានដូចតទៅ៖

១. អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَهُوَ ٱلَّذِى مَرَجَ ٱلْبَحْرَيْنِ هَٰذَا عَذْبٌ فُرَاتٌ وَهَٰذَا مِلْحٌ أُجَاجٌ وَجَعَلَ بَيْنَهُمَا بَرْزَخًا وَحِجْرًا مَّحْجُورًا ﴿٥٣﴾ ﴾ سورة الفرقان: ٥٣

មានន័យថា : *«ទ្រង់ជាព្រះដែលបានធ្វើឱ្យសមុទ្រពីរប្រសព្វគ្នា មួយទឹកសាបមានឱជារស ហើយមួយទៀតទឹកប្រៃល្វីង។ ទ្រង់ធ្វើឱ្យមានដែនខណ្ឌចែករវាងសមុទ្រទាំងពីរមិនអាចច្របល់ចូលគ្នាបានឡើយ»*។

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា :

﴿ أَوْ كَظُلُمَٰتٍ فِى بَحْرٍ لُّجِّىٍّ يَغْشَىٰهُ مَوْجٌ مِّن فَوْقِهِۦ مَوْجٌ مِّن فَوْقِهِۦ سَحَابٌ ۚ ظُلُمَٰتٌۢ بَعْضُهَا فَوْقَ بَعْضٍ إِذَآ أَخْرَجَ يَدَهُۥ لَمْ يَكَدْ يَرَىٰهَا ۗ وَمَن لَّمْ يَجْعَلِ ٱللَّهُ لَهُۥ نُورًا فَمَا لَهُۥ مِن نُّورٍ ﴿٤٠﴾ ﴾ سورة النور: ٤٠

មានន័យថា : «*ឬក៏សភាពរបស់ពួកអ្នកគ្មានជំនឿហាក់បីដូចជាភាពខ្មៅងងឹតក្នុងសមុទ្រដ៏ជ្រៅគ្របដណ្តប់ដោយរលក។ នៅពីលើរលកមានរលក ហើយលើរលកនោះមានពពក។ ភាពខ្មៅងងឹតគ្របដណ្តប់ត្រួតលើគ្នា។ ប្រសិនបើគេលាដៃឡើងលើ គេពិតជាមិនអាចមើលឃើញឡើយ។ អ្នកដែលអល់ឡោះទ្រង់មិនប្រទានពន្លឺដល់គេ គឺគេគ្មានពន្លឺនោះឡើយ*»។

គេបានដឹងជាទូទៅថា លោកមូហាំម៉ាត់មិនដែលដើរសមុទ្រទេ ហើយក្នុងសម័យគាត់ពុំមានមធ្យោបាយ ឬសម្ភារៈដែលជួយផ្គត់ផ្គង់ក្នុងការសិក្សាស្រាវជ្រាវពីជម្រៅក្នុងបាតសមុទ្រនោះដែរ។ ដូច្នេះ តើមាននរណាប្រាប់មូហាំម៉ាត់ពីចំណេះដឹងទាំងនេះ ក្រៅពីអល់ឡោះ។

២. អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَلَقَدۡ خَلَقۡنَا ٱلۡإِنسَٰنَ مِن سُلَٰلَةٖ مِّن طِينٖ ١٢ ثُمَّ جَعَلۡنَٰهُ نُطۡفَةٗ فِي قَرَارٖ مَّكِينٖ ١٣ ثُمَّ خَلَقۡنَا ٱلنُّطۡفَةَ عَلَقَةٗ فَخَلَقۡنَا ٱلۡعَلَقَةَ مُضۡغَةٗ فَخَلَقۡنَا ٱلۡمُضۡغَةَ عِظَٰمٗا فَكَسَوۡنَا ٱلۡعِظَٰمَ لَحۡمٗا ثُمَّ أَنشَأۡنَٰهُ خَلۡقًا ءَاخَرَۚ فَتَبَارَكَ ٱللَّهُ أَحۡسَنُ ٱلۡخَٰلِقِينَ ١٤ ﴾ سورة المؤمنون: ١٢- ١٤

មានន័យថា : «*យើងបានបង្កើតអាដាំពីធាតុដីឥដ្ឋ បន្ទាប់មកយើងបង្កើតកូនចៅរបស់គេដោយតំណក់ទឹកកាមបង្កកំណើតក្នុងស្បូនដ៏មានសុវត្ថិភាព។ យើងបានបង្កើតតំណក់ទឹកកាមនោះជាដុំឈាម ហើយបង្កើតដុំឈាមឱ្យកើតជាដុំសាច់។ យើងបង្កើតដុំសាច់នោះជាឆ្អឹង ហើយយើងបានបង្កើតឱ្យមានសាច់ដុះគ្របឆ្អឹងទាំងនោះ។ បន្ទាប់មកយើងបង្កើតគេ ជាកំណើតមួយផ្សេងទៀតដោយផ្លុំវិញ្ញាណចូល។ អល់ឡោះជាម្ចាស់ទ្រង់មហាបវរ។ ទ្រង់ជាអ្នកបង្កើតដ៏សុក្រឹតឥតខ្ចោះ*»។

ពួកអ្នកប្រាជ្ញវិទ្យាសាស្ត្រមិនបានស្រាវជ្រាវរកឃើញលម្អិតពីដំណាក់កាលនៃការបង្កកំណើតនេះនៅឡើយទេ។ ពួកគេទើបតែរកឃើញនាសម័យបច្ចុប្បន្ននេះប៉ុណ្ណោះ។

៣. អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَعِندَهُۥ مَفَاتِحُ ٱلۡغَيۡبِ لَا يَعۡلَمُهَآ إِلَّا هُوَۚ وَيَعۡلَمُ مَا فِي ٱلۡبَرِّ وَٱلۡبَحۡرِۚ وَمَا تَسۡقُطُ مِن وَرَقَةٍ إِلَّا يَعۡلَمُهَا وَلَا حَبَّةٖ فِي ظُلُمَٰتِ ٱلۡأَرۡضِ وَلَا رَطۡبٖ وَلَا يَابِسٍ إِلَّا فِي كِتَٰبٖ مُّبِينٖ ٥٩ ﴾ سورة الأنعام: ٥٩

មានន័យថា : *«អល់ឡោះជាម្ចាស់ទ្រង់មានកូនសោអាថ៌កំបាំងដែលគ្មាននរណាម្នាក់ដឹងទេ លើកលែងតែទ្រង់។ ទ្រង់ដឹងពីអ្វីដែលនៅលើគោក និងនៅក្នុងសមុទ្រ។ គ្មានស្លឹកឈើណាមួយជ្រុះលើកលែងតែទ្រង់ដឹង។ គ្មានគ្រាប់ធញ្ញជាតិណាមួយឋិតនៅក្រោមផ្ទៃងងឹតនៃផែនដី ហើយគ្មានអ្វីដែលស្រស់ និងអ្វីដែលស្ងួតឡើយ លើកលែងមានចារក្នុងបញ្ជីព្រះលិខិតយ៉ាងច្បាស់លាស់»*។

មនុស្សលោកពុំដែលធ្លាប់គិតពីគំនិតដ៏ទូលំទូលាយនេះទេ។ គេមិនដែលគិតពីរឿងនេះ និងគ្មានសមត្ថភាពនឹងគិតពីរឿងនេះឡើយ។ ប្រសិនបើជាមានពួកអ្នកស្រាវជ្រាវមួយក្រុមពិនិត្យសង្កេតលើកូនរុក្ខជាតិមួយដែលទើបនឹងដុះ ឬក៏សត្វល្អិតអ្វីមួយ ហើយពួកគេធ្វើការកត់ត្រាតាមអ្វីដែលពួកគេបានដឹងគឺពួកយើងនាំគ្នាស្ងើចសរសើរចំពោះរឿងនេះដោយក្នុងចិត្តដឹងថា អ្វីដែលនៅលាក់បាំងពីពួកគេមានច្រើនជាងអ្វីដែលពួកគេបានរកឃើញ។

ពិតណាស់លោកមូរីសបូកាយ ជាអ្នកប្រាជ្ញបារាំងម្នាក់បានធ្វើការប្រៀបធៀបរវាងគម្ពីរតាវរ៉ត អិញ្ជីល គម្ពីរអាល់គួរអាន និងអ្វីដែលគេបានសិក្សាស្រាវជ្រាវរកឃើញក្នុងសម័យទំនើបទាក់ទងនឹងការបង្កើតមេឃបង្កើតដី និងការបង្កើតមនុស្ស។ លោកបានរកឃើញថា របកគំហើញបច្ចុប្បន្នឯកភាពគ្នាជាមួយនឹងអ្វីដែលមានចែងក្នុងគម្ពីរអាល់គួរអាន។ ឯចំណែកគម្ពីរតាវរ៉ត និងអិញ្ជីលដែលមាននៅក្នុងពេលបច្ចុប្បន្នគឺពោរពេញដោយចំណេះដឹងខុសភាគច្រើនដែលស្តីអំពីការបង្កើតមេឃ ការបង្កើតដី ការបង្កើតមនុស្ស និងសត្វ។

ខ. ធម្មបដិបត្តិនិយមរបស់ណាពីមូហាំម៉ាត់

អល់ឡោះជាម្ចាស់បានប្រទានគម្ពីរអាល់គួរអានដល់ណាពីមូហាំម៉ាត់ ហើយទ្រង់បានប្រទានដល់គាត់នូវអ្វីផ្សេងទៀតដែលដូចនឹងគម្ពីនេះដែរ គឺធម្មបដិបត្តិនិយម(ស៊ុណ្ណះ)ដែលបកស្រាយនិងពន្យល់អំពីគម្ពីរអាល់គួរអាន។ ណាពីមូហាំម៉ាត់បានមានប្រសាសន៏ថា :

قال رسول الله صلى الله عليه وسلم : ( ألا اني أوتيت القرآن ومثله معه ) مسند الإمام أحمد

មានន័យថា : *«ពិតណាស់ អល់ឡោះជាម្ចាស់បានប្រទានគម្ពីរអាល់គួរអានដល់ខ្ញុំ ហើយប្រទានអ្វីផ្សេងទៀតដែលស្រដៀងនឹងគម្ពីរនេះ»*។

ពិតណាស់អល់ឡោះជាម្ចាស់បានអនុញ្ញាតឱ្យគាត់ធ្វើការពន្យល់បកស្រាយអំពីន័យសេចក្តីនិងខ្លឹមសារនៅក្នុងគម្ពីរអាល់គួរអានជាលក្ខណៈទូទៅ ដោយឡែក និងជាលក្ខណៈរួម។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَأَنزَلْنَآ إِلَيْكَ ٱلذِّكْرَ لِتُبَيِّنَ لِلنَّاسِ مَا نُزِّلَ إِلَيْهِمْ وَلَعَلَّهُمْ يَتَفَكَّرُونَ ﴿٤٤﴾ ﴾ سورة النحل: ٤٤

មានន័យថា : *«ពិតប្រាកដណាស់ យើងបានប្រទានគម្ពីរអាល់គួរអានដល់អ្នក ដើម្បីឱ្យអ្នកពន្យល់បកស្រាយប្រាប់មនុស្សលោកនូវអ្វីដែលទ្រង់បានប្រទានចុះមកចំពោះពួកគេ។ សង្ឃឹមថាពួកគេត្រិះរិះពិចារណា»។*

ធម្មបដិបត្តិនិយម(ស៊ុណ្ណះ) គឺជាប្រភពទី២នៃឫសគល់របស់ឥស្លាម។ គឺជាអ្វីដែលគេនិទានអំពីណាពីមូហាំម៉ាត់ ដោយមានវិធីសាស្រ្តនិទានដ៏ត្រឹមត្រូវ បន្តបន្ទាប់គ្នា ទាំងពាក្យសម្តី ទង្វើ ការយល់ព្រម និងការពណ៌នា។

ធម្មបដិបត្តិនិយមក៏ជាការត្រាស់បន្ទូលរបស់អល់ឡោះមកចំពោះអ្នកនាំសារ(មូហាំម៉ាត់)ផងដែរ។ ពីព្រោះអ្នកនាំសារ(មូហាំម៉ាត់)មិននិយាយតាមមនោវិតក្ករបស់គាត់នោះទេ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :



﴿ وَمَا يَنطِقُ عَنِ ٱلْهَوَىٰٓ ﴿٣﴾ إِنْ هُوَ إِلَّا وَحْىٌ يُوحَىٰ ﴿٤﴾ عَلَّمَهُۥ شَدِيدُ ٱلْقُوَىٰ ﴿٥﴾ ﴾ سورة النجم: ٣ - ٥

មានន័យថា : *«គេមិននិយាយតាមនោវិតក្កនោះទេ។ តាមពិតគឺជាការត្រាស់បន្ទូលអំពីអល់ឡោះដែលទ្រង់បានប្រទានចុះមក។ អ្នកដែលបង្រៀនគេ គឺទេវតាដែលមានអំណាចខ្លាំងក្លា»។*

តាមពិតណាពីមូហាំម៉ាត់ផ្សព្វផ្សាយប្រាប់មនុស្សតាមអ្វីដែលទ្រង់បានបង្គាប់តែប៉ុណ្ណោះ ដូចដែលទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنْ أَتَّبِعُ إِلَّا مَا يُوحَىٰٓ إِلَىَّ وَمَآ أَنَا۠ إِلَّا نَذِيرٌ مُّبِينٌ ﴿٩﴾ ﴾ سورة الأحقاف: ٩

មានន័យថា : *«អ្វីដែលខ្ញុំបង្គាប់ប្រើពួកអ្នក និងអ្វីដែលខ្ញុំធ្វើ គ្មានធ្វើតាមអ្វីក្រៅពីការត្រាស់បន្ទូលរបស់អល់ឡោះដែលទ្រង់បានត្រាស់បង្គាប់មកចំពោះខ្ញុំនោះទេ។ ខ្ញុំគ្មានតួនាទីអ្វី ក្រៅពីជាអ្នកដាស់តឿន និងប្រៀនប្រដៅនោះឡើយ»។*

ធម្មបដិបត្តិនិយម(ស៊ុណ្ណះ)ដ៏ស្អាតស្អំបំផុតនោះ គឺជាការអនុវត្តជាក់ស្តែងរបស់ឥស្លាមទាំងផ្នែកច្បាប់ ជំនឿ ការគោរពសក្ការៈ ទំនាក់ទំនង និងសីលធម៌។ ណាពីមូហាំម៉ាត់អនុវត្តនូវអ្វីដែលគេបានបង្គាប់ប្រើចំពោះគាត់ ហើយគាត់ពន្យល់បកស្រាយរឿងនោះ ប្រាប់ដល់មនុស្សលោកទាំងអស់។ គាត់បានបង្គាប់ប្រើឱ្យមនុស្សលោកអនុវត្តដូចដែលគាត់អនុវត្ត។ គាត់បានមានប្រសាសន៍ថា :

قال النبي صلى الله عليه وسلم : ( صلوا كما رأيتموني أصلي ) صحيح البخاري.

មានន័យថា :*«ចូរពួកអ្នកថ្វាយបង្គំដូចដែលពួកអ្នកឃើញខ្ញុំថ្វាយបង្គំ»។*

ជាការពិតណាស់ អល់ឡោះជាម្ចាស់បង្គាប់ប្រើពួកអ្នកមានជំនឿឱ្យយកគំរូតាមណាពីមូហាំម៉ាត់ទាំងកាយវិការ និងពាក្យសម្តី ដើម្បីឱ្យជំនឿរបស់ពួកគេពេញលក្ខណៈ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ لَّقَدْ كَانَ لَكُمْ فِي رَسُولِ ٱللَّهِ أُسْوَةٌ حَسَنَةٌ لِّمَن كَانَ يَرْجُواْ ٱللَّهَ وَٱلْيَوْمَ ٱلْآخِرَ وَذَكَرَ ٱللَّهَ كَثِيرًا ﴿٢١﴾ ﴾ سورة الأحزاب: ٢١

មានន័យថា : *«ប្រាកដណាស់ ពួកអ្នកនាំសាររបស់អល់ឡោះជាគំរូដ៏ប្រសើរបំផុតសម្រាប់អ្នកដែលមានសង្ឃឹមចំពោះអល់ឡោះនិងថ្ងៃបរលោក ហើយសូត្រធម៌រំឭកចំពោះអល់ឡោះយ៉ាងច្រើនជាទីបំផុត»។*

ពួកសហការីដ៏ប្រពៃរបស់ណាពីមូហាំម៉ាត់ បានពាំនាំសម្តី និងទង្វើរបស់គាត់មកឱ្យពួកអ្នកជំនាន់ក្រោយ។ ពួកជំនាន់នោះ ក៏បញ្ជូនមកឱ្យពួកជំនាន់ក្រោយៗមកទៀត។ បន្ទាប់មកគេកត់ត្រាដាក់ក្នុងកំណត់ត្រាធម្មបដិបត្តិនិយម។ ពិតណាស់ ពួកអ្នកចម្លងធម្មបដិបត្តិនិយមទាំងនោះបានដាក់ល័ក្ខខ័ណ្ឌយ៉ាងតឹងរឹងចំពោះអ្នកដែលបាននិទានអំពីគាត់។ ពួកគេទាមទារឱ្យពួកអ្នកដែលទទួលយកពីគាត់គឺជាអ្នកដែលរស់នៅក្នុងសម័យគាត់ដើម្បីឱ្យសេចក្តីយោងទាំងឡាយរបស់ពួកអ្នកនិទានទាំងនោះយោងផ្ទាល់ទៅនឹងអ្នកនាំសាររបស់អល់ឡោះ។ ម្យ៉ាងទៀតពួកអ្នកដែលជាប្រភពនៃការនាំនិទាននោះ ចាំបាច់ត្រូវតែជាមនុស្សដែលគេទុកចិត្តបំផុត ប្រកាន់នូវភាពយុត្តិធម៌ ទៀងត្រង់ និងស្មោះត្រង់។

ដូចដែលបានលើកឡើងកន្លងមក ធម្មបដិបត្តិនិយម គឺជាការអនុវត្តជាក់ស្តែងសម្រាប់ឥស្លាម ហើយក៏ជាការពន្យល់បកស្រាយអំពីគម្ពីរអាល់គួរអាន និងវាក្យខណ្ឌដែលមានក្នុងគម្ពីរនេះផងដែរ។ ជួនកាលបំណកស្រាយជាលក្ខណៈរួមនៃក្បួនច្បាប់ទាំងឡាយ។ ជួនកាលណាពីមូហាំម៉ាត់បកស្រាយអ្វីដែលគេប្រទានចុះមកនោះជាពាក្យសម្តី ជាកាយវិការ ហើយជួនខ្លះទៀតបកស្រាយទាំងពីររួមគ្នាតែម្តង។ ធម្មបដិបត្តិនិយមខ្លះមានភាពឯករាជ្យពីគម្ពីរអាល់គួរអាន ដោយការពន្យល់បកស្រាយពីក្បួនច្បាប់ និងការបញ្ញត្តច្បាប់ផ្សេងៗ។

ចាំបាច់ត្រូវមានជំនឿចំពោះគម្ពីរអាល់គួរអាន និងធម្មបដិបត្តិនិយមថា ជាប្រភពមូលដ្ឋានពីរនៅក្នុងសាសនាឥស្លាម ដែលត្រូវតែ

ប្រតិបត្តិតាម និងជាឯកសារយោង។ ត្រូវប្រតិបត្តិតាមការបង្គាប់ប្រើ ដែលមានចែងក្នុងប្រភពទាំងពីរ និងត្រូវតែជៀសវាងពីអ្វីដែលប្រភពទាំងពីរបានហាមឃាត់។ ត្រូវមានជំនឿចំពោះដំណឹងដែលចេញពីប្រភពទាំងពីរ មានជំនឿចំពោះព្រះនាម ព្រះលក្ខណៈសម្បត្តិ ព្រះទង្វើ និងអ្វីដែលអល់ឡោះបានសន្យាសម្រាប់ពួកអ្នកមានជំនឿ និងអ្វីដែល ទ្រង់បានគំរាមកំហែងចំពោះពួកអ្នកគ្មានជំនឿ ដែលមានចែងក្នុងប្រភពទាំងពីរនេះ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ فَلَا وَرَبِّكَ لَا يُؤْمِنُونَ حَتَّىٰ يُحَكِّمُوكَ فِيمَا شَجَرَ بَيْنَهُمْ ثُمَّ لَا يَجِدُوا۟ فِىٓ أَنفُسِهِمْ حَرَجًا مِّمَّا قَضَيْتَ وَيُسَلِّمُوا۟ تَسْلِيمًا ﴿٦٥﴾ ﴾ سورة النساء: ٦٥

មានន័យថា : *«សូមស្បថចំពោះព្រះជាម្ចាស់របស់ឯង ពួកគេពុំទាន់មានជំនឿទេ លុះត្រាតែពួកគេយកជម្លោះរបស់ពួកគេមកឱ្យឯងកាត់សេចក្តី។ បន្ទាប់មក ពួកគេគ្មានការទើសទាល់ចង្អៀតចិត្តចំពោះអ្វីដែលឯងបានសម្រេច ហើយពួកគេព្រមទទួល ដោយសេចក្តីគោរពប្រតិបត្តិ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَمَآ ءَاتَىٰكُمُ ٱلرَّسُولُ فَخُذُوهُ وَمَا نَهَىٰكُمْ عَنْهُ فَٱنتَهُوا۟ ﴾ سورة الحشر: ٧

មានន័យថា : *«អ្វីដែលអ្នកនាំសារបាននាំមកឱ្យពួកអ្នក ចូរពួកអ្នកទទួលយកចុះ ហើយអ្វីដែលគេហាមឃាត់ចំពោះពួកអ្នក ចូរពួកអ្នកបញ្ឈប់វាភ្លាម»។*

បន្ទាប់ពីបានពន្យល់ណែនាំពីប្រភពនៃសាសនានេះ យើងសូមលើកឡើងអំពីមូលដ្ឋានគ្រឹះទាំងបីនៃសាសនាឥស្លាមគឺ ឥស្លាម ជំនឿ

និងកុសលធម៌(អៀវសាន)។ យើងនឹងបកស្រាយសង្ខេបអំពីគោលការណ៍គ្រឹះនៃឋានានុក្រមទាំងនេះ។



# ឋានានុក្រមសាសនា
# ទី១ ឥស្លាម
## គោលការណ៍មូលដ្ឋានចំនួនប្រាំនៃឥស្លាមគឺ

ពាក្យសច្ចាទាំងពីរ ការថ្វាយបង្គំ ការបរិច្ចាគទ្រព្យសម្បត្តិ បួស និងការធ្វើធម្មយាត្រា។

ពាក្យសច្ចាទាំងពីរ៖ គឺជាពាក្យសច្ចាដែលពោលថា គ្មានព្រះជាម្ចាស់ទេ លើកលែងតែអល់ឡោះ ហើយសច្ចាថា មូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ។

អត្ថន័យនៃពាក្យថា «គ្មានព្រះជាម្ចាស់ លើកលែងតែអល់ឡោះ» គឺគ្មានព្រះដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដនៅលើភពផែនដីនេះ និងនៅលើមេឃ លើកលែងតែអល់ឡោះតែមួយគត់។ ទ្រង់គឺជាព្រះពិត ហើយព្រះផ្សេងក្រៅពីទ្រង់សុទ្ធតែមោឃៈ។ ចាំបាច់ត្រូវតែមានសទ្ធាជ្រះថ្លាក្នុងការគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់។




ត្រូវបដិសេធការគោរពសក្ការៈចំពោះព្រះដទៃក្រៅពីទ្រង់។ អ្នកដែលពោលពាក្យនេះពុំទាន់ទទួលបានប្រយោជន៍នោះទេ លុះត្រាតែបានសម្រេចពីរប្រការដូចខាងក្រោម៖

ទី១. ពោលពាក្យ « គ្មានព្រះជាម្ចាស់ លើកលែងតែអល់ឡោះ» ចេញពីជំនឿក្នុងចិត្ត មានការយល់ដឹង មានជំនឿ និងដោយសេចក្តីស្រលាញ់ពេញចិត្ត។

ទី២. បដិសេធ មិនព្រមជឿចំពោះអ្វីដែលគេគោរពបូជាផ្សេងពីអល់ឡោះ។ ចំពោះអ្នកដែលបានពោលពាក្យសច្ចានេះ ហើយពុំបាន

បដិសេធចំពោះអ្វីផ្សេង ដែលគេគោរពបូជាក្រៅពីអល់ឡោះនោះ ពាក្យពោលរបស់គេពុំទាន់មានប្រយោជន៍សម្រាប់រូបគេនោះទេ។

អត្ថន័យនៃពាក្យសច្ចាថា«មូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ» គឺត្រូវប្រតិបត្តិនូវអ្វីដែលគាត់បានបង្គាប់ប្រើ ហើយជឿជាក់នូវអ្វីដែលគាត់បានប្រាប់។ ជៀសវាងពីអ្វីដែលគាត់បានហាមឃាត់ និងស្អប់ខ្ពើម។ មិនត្រូវគោរពសក្ការៈចំពោះអល់ឡោះ លើកលែងតែអ្វីដែលគាត់បានបង្គាប់ប្រើ។ ម៉្យាងទៀត ចាំបាច់ត្រូវស្វែងយល់ និងមានជំនឿថា មូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះសម្រាប់មនុស្សលោកទាំងមូល។ គាត់គឺជាខ្ញុំបម្រើរបស់ព្រះ។ ពុំត្រូវគោរពបូជាចំពោះគាត់នោះទេ។ គាត់គឺជាអ្នកនាំសារដែលគេពុំត្រូវបដិសេធនោះទេ។ ក៏ប៉ុន្តែត្រូវស្តាប់បង្គាប់ និងប្រតិបត្តិតាម។ ជនណាប្រតិបត្តិតាមគាត់ គឺជននោះនឹងបានចូលឋានសួគ៌ ហើយជនណាល្មើសចំពោះគាត់ ជននោះនឹងចូលនរក។ ត្រូវដឹងនិងមានជំនឿថា បញ្ញត្តិច្បាប់ទាក់ទងនឹងគោលជំនឿ ឬទាក់ទងនឹងរបៀបរបបនៃការគោរពសក្ការៈដែលអល់ឡោះទ្រង់បានបង្គាប់ប្រើ ឬទាក់ទងនឹងប្រព័ន្ធច្បាប់ នីតិប្រតិបត្តិ ឬនីតិបញ្ញត្តិ ឬទាក់ទងនឹងផ្នែកសីលធម៌ ឬទាក់ទងនឹងការកសាងគ្រួសារ ឬទាក់ទងនឹងបញ្ញត្តិច្បាប់ហាម ឬអនុញ្ញាត ចាំបាច់ត្រូវតែតាមរយៈមូហាំម៉ាត់ ពីព្រោះគាត់គឺជាអ្នកដែលមានតួនាទីផ្សព្វផ្សាយពីក្បួនច្បាប់ឥស្លាម។

**ការថ្វាយបង្គំ៖** ការថ្វាយបង្គំ គឺជាគោលការណ៍គ្រឹះទីពីរនៃមូលដ្ឋានគ្រឹះឥស្លាម។ តាមពិត វាគឺសសរគ្រឹះនៃឥស្លាម ព្រោះវាជាចំណងទាក់ទងរវាងមនុស្សលោកនឹងព្រះជាម្ចាស់របស់គេ។ ការគោរពដដែលៗចំនួន

ប្រាំដងក្នុងមួយថ្ងៃ។ ការថ្វាយបង្គំនេះ ជួយស្តារជំនឿរបស់គេឡើងវិញ ជម្រះសម្អាតដួងចិត្ត និងកម្អែលនៃបាបកម្ម។ ការថ្វាយបង្គំនេះក៏អាចការពាររូបគេពីអំពើអបាយមុខ និងអំពើបាបទាំងឡាយ។ នៅពេលព្រឹកព្រលឹមដែលគេក្រោកពីដំណេក គេអនុវត្តការថ្វាយបង្គំចំពោះព្រះជាម្ចាស់របស់ខ្លួនដោយសេចក្តីជ្រះថ្លាស្អាតស្អំ មុននឹងគេចេញទៅបំពេញកិច្ចការចិញ្ចឹមជីវិត បន្ទាប់ពីគេបានថ្វាយបង្គំលើកតម្កើងព្រះជាម្ចាស់របស់គេ។ គេបានទទួលស្គាល់ទ្រង់ជាព្រះដែលគេត្រូវគោរពសក្ការៈ បួងសួងសុំជំនួយ និងសុំការចង្អុលបង្ហាញ។ គេបានស្តារឡើងវិញនូវចំណងនៃការគោរពប្រតិបត្តិ និងការសក្ការៈដោយការឱនក្រាប ងើបឈរ និងលំឱនកាយគោរពដដែលៗរៀងរាល់ថ្ងៃចំនួនប្រាំដងក្នុងមួយថ្ងៃ។ ការប្រតិបត្តិថ្វាយបង្គំនេះ ចាំបាច់ត្រូវស្អាតស្អំទាំងចិត្តគំនិត ខ្លួនប្រាណ សម្លៀកបំពាក់ និងកន្លែងថ្វាយបង្គំ។ អ្នកមូស្លីមត្រូវប្រតិបត្តិការថ្វាយបង្គំរួមជាក្រុមជាមួយនឹងបងប្អូនមូស្លីមដទៃទៀត ឧទ្ទិសដល់ព្រះជាម្ចាស់របស់ពួកគេ។ ពួកគេទាំងអស់គ្នាបែរមុខតម្រង់ទៅវិហារកាក់ហ្ពះ។ ការថ្វាយបង្គំត្រូវបានរៀបចំជារបៀបមួយពេញលក្ខណៈ ល្អប្រសើរ ដែលមនុស្សប្រតិបត្តិថ្វាយដល់ព្រះដែលបានបង្កើតរូបគេ។ ការថ្វាយបង្គំនេះរួមមានការលើកតម្កើងចំពោះទ្រង់ដោយការសូត្រ កាយវិការ អវយវៈ ក្បាល វិញ្ញាណ និងខ្លួនប្រាណទាំងមូល។ ខ្លួនប្រាណទាំងមូលមានចំណែកក្នុងការថ្វាយបង្គំនេះ។

វិញ្ញាណ អវយវៈ ខ្លួនប្រាណទាំងមូលទទួលបានចំណែកក្នុងការប្រតិបត្តិចំពោះអល់ឡោះ ហើយចិត្តក៏មានចំណែកផងដែរ។ ការ

គោរពសក្ការៈរួមមានសេចក្ដីសរសើរ ការដឹងគុណ កាលើកតម្កើង ការលើកតម្កើងព្រះកិត្តិនាមរបស់ទ្រង់ ពោលពាក្យសច្ចាដោយស្មោះត្រង់ សូត្រគម្ពីរអាល់គួរអាន ការក្រោកឈរប្រតិបត្តិចំពោះព្រះជាម្ចាស់ក្នុងនាមជាខ្ញុំបម្រើ ដែលបន្ទាបខ្លួន ឱនលំទោន ស្ដាប់បង្គាប់ចំពោះព្រះជាម្ចាស់ ដែលទ្រង់ជាអ្នកគ្រប់គ្រង និងចាត់ចែង។ ម្យ៉ាងទៀត ក្នុងពេលកំពុងឈរប្រតិបត្តិនោះ ចាំបាច់ត្រូវបួងសួងអង្វរករ និងគោរពបូជាចំពោះទ្រង់។ បន្ទាបខ្លួន ឱនគោរព ក្រាបគោរព និងអង្គុយដោយសេចក្ដីគោរពកោតខ្លាច ស្ញប់ស្ញែង ដើម្បីលើកតម្កើងចំពោះទ្រង់ ហើយឱនលំទោនចំពោះព្រះតេជានុភាពរបស់ទ្រង់។ ការប្រតិបត្តិនេះនាំឱ្យចិត្តរបស់គេទន់ភ្លន់ ខ្លួនប្រាណរបស់គេឱនលំទោន ហើយឥរិយាបថខ្លួនប្រាណរបស់គេស្រគត់ស្រគំ។ បន្ទាប់មក គេបញ្ចប់ការថ្វាយបង្គំរបស់គេដោយសេចក្ដីសរសើរ និងដឹងគុណចំពោះអល់ឡោះ ព្រមទាំងជូនពរសិរីសួស្ដីកើតមានចំពោះណាពីមូហាំម៉ាត់។ បន្ទាប់មកទៀតបួងសួងសុំពីអល់ឡោះ សូមទ្រង់មេត្តាប្រទានដល់រូបគេនូវកុសលធម៌ទាំងក្នុងលោកីយ៍នេះ និងបរលោក។

**ការបរិច្ចាគទ្រព្យ៖** ការបរិច្ចាគទ្រព្យ គឺជាគោលការណ៍គ្រឹះទីបីនៃឥស្លាម។ ចាំបាច់លើអ្នកមូស្លីមដែលមានទ្រព្យសម្បត្តិធូរធារ ត្រូវបរិច្ចាគទ្រព្យមួយចំណែកតូចបំផុត ដើម្បីចែកជូនដល់អ្នកទីទ័លក្រ ខ្វះខាត និងអ្នកដទៃទៀតដែលច្បាប់អនុញ្ញាតឱ្យចែកជូនដល់ពួកគេ។

ចាំបាច់លើអ្នកមូស្លីម ដែលចែកទ្រព្យបរិច្ចាគដល់អ្នកដែលមានសិទ្ធិទទួលនោះ ដោយសទ្ធាជ្រះថ្លា និងដោយសុទ្ធចិត្ត។ មិនត្រូវ

និយាយរំលើកគុណ និងនិយាយពាក្យមុសាដល់អ្នកទាំងនោះឡើយ។ ចាំបាច់ត្រូវបរិច្ចាគទ្រព្យក្នុងបំណងចង់បានផលបុណ្យពីអល់ឡោះជាម្ចាស់ ពុំមែនចង់បានប្រយោជន៍ ឬសគុណពីមនុស្សលោកនោះឡើយ។ ត្រូវបរិច្ចាគដោយសទ្ធាជ្រះថ្លាចំពោះអល់ឡោះ មិនមែនចង់បានមុខមាត់ និងកេរ្តិ៍ឈ្មោះនោះទេ។

ការបរិច្ចាគទ្រព្យនាំមកនូវពរជ័យ ធ្វើល្អ និងយល់ចិត្តអ្នកក្រ អ្នកខ្វះខាត កុំឱ្យមានភាពសៅហ្មង និងការច្រណែនឈ្នានីស។ម្យ៉ាងទៀត បើសិនពួកអ្នកមានមិនអើពើចំពោះពួកគេនោះ ពួកគេនឹងទៅសុំទានពីអ្នកដទៃ គ្មានការអាណិតអាសូរដល់ពួកគេ ធ្វើឱ្យពួកគេទទួលរងនូវគ្រោះអត់ឃ្លាន ខ្វះខាតមិនខាន ។ ការបរិច្ចាគទ្រព្យ គឺជាការប្រកាន់នូវលក្ខណសម្បត្តិសប្បុរស មានចិត្តទូលាយចេះគិតគូរពីអ្នកដទៃ មានការលះបង់ និងអាណិតអាសូរដល់ពួកគេ។ ជម្រះសម្អាតខ្លួនពីលក្ខណៈរិះកំណាញ់ ឃោរឃៅ គ្មានចិត្តអាណិតអាសូរ។ ការបរិច្ចាគទ្រព្យនាំឱ្យអ្នកមូស្លីមចេះសាមគ្គីគ្នា អ្នកមានចេះអាណិតអាសូរដល់អ្នកក្រ។ ក្នុងសង្គមលែងមានវណ្ណៈមនុស្សក្រទុគិត អ្នកជំពាក់បំណុលរ័ណ្តក និងអ្នកដំណើរដាច់សង្វេងគ្មានទីពឹង។

**បួស៖** បួសក្នុងខែរ៉ម៉ាហ្ទនចាប់ពីសេតារុណរហូតដល់ថ្ងៃលិច។ អ្នកបួសត្រូវតមពីការទទួលទាន ការរួមដំណេក ដោយសេចក្តីគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់ ។ រក្សាការពារខ្លួនអំពីកាមតណ្ហា។ ពិតណាស់អល់ឡោះជាម្ចាស់បានសម្រាលការបួសនេះចំពោះអ្នកជម្ងឺ អ្នកដំណើរ

ស្ត្រីមានផ្ទៃពោះ ស្ត្រីមានរដូវ និងស្ត្រីដែលទើបឆ្លងទន្លេរួច។ ពួកគេម្នាក់ៗមានច្បាប់ពិសេសសម្រាប់អនុវត្ត។

ក្នុងខែនេះអ្នកមូស្លីមត្រូវបញ្ឈប់កាមតណ្ហារបស់ខ្លួន។ រួមជាមួយនឹងការប្រតិបត្តិនេះ អ្នកមូស្លីមចាកចេញពីភាពជាមនុស្សលោកមានបាបកម្ម ទៅរកភាពជាទេវតាដែលនៅជិតព្រះជាម្ចាស់។ អ្នកបួសកំពុងតាំងខ្លួនជាបុគ្គលដែលលះបង់ មិនត្រូវការលោកីយ៍ ចង់បានតែការសព្វព្រះទ័យរបស់អល់ឡោះជាម្ចាស់តែប៉ុណ្ណោះ។

បួសនាំឱ្យដួងចិត្តមានជីវិត លះបង់ភាពលោភលន់ក្នុងលោកីយ៍ ពេញចិត្តនឹងការប្រទានរបស់អល់ឡោះ។ បួសជួយរំឭកពួកអ្នកមានឱ្យចេះគិតគូរដល់ពួកអ្នកក្រីក្រ និងស្ថានភាពរស់នៅរបស់ពួកគេ។ បួសធ្វើឱ្យដួងចិត្តរបស់ពួកអ្នកមានចេះអាណិតអាសូរដល់ពួកអ្នកក្រ ហើយដឹងថា ខ្លួនឯងកំពុងឋិតក្នុងពរជ័យរបស់អល់ឡោះដ៏ធំធេង ដើម្បីឱ្យគេបង្កើននូវការដឹងគុណរបស់គេចំពោះទ្រង់។

បួសជម្រះសម្អាតផ្លូវចិត្ត ជួយតម្រង់ចិត្តទៅរកការកោតខ្លាចចំពោះអល់ឡោះ។ បួសធ្វើឱ្យបុគ្គល និងសង្គមមានអារម្មណ៍ដឹងពីការឃ្លាំមើលរបស់អល់ឡោះទាំងក្នុងទីមានសុវត្ថិភាព និងពេលមានគ្រោះថ្នាក់ ទាំងនៅទីកំបាំង និងនៅទីសាធារណៈ។ សង្គមទាំងមូលរស់នៅពេញមួយខែដោយរក្សាការគោរពប្រតិបត្តិនេះ និងធ្វើឱ្យមានអារម្មណ៍ដឹងអំពីការឃ្លាំមើលរបស់អល់ឡោះ ហើយជំរុញឱ្យកាន់តែកោតខ្លាចចំពោះអល់ឡោះ មានជំនឿចំពោះទ្រង់ និងមានជំនឿចំពោះថ្ងៃបរលោក។ មានជំនឿជឿជាក់ថា អល់ឡោះដឹងជ្រាបពីអាថិ

កំបាំង និងអ្វីដែលអាថ៌កំបាំងបំផុត។ គេមានជំនឿជាក់យ៉ាងច្បាស់ថា ថ្ងៃណាមួយបុគ្គលគ្រប់រូបនឹងទៅឈរនៅចំពោះព្រះភ័ក្ត្រព្រះជាម្ចាស់។ ទ្រង់នឹងសួរអំពីការប្រតិបត្តិរបស់គេគ្រប់យ៉ាងទាំងតូច ទាំងធំ ។

**ធម្មយាត្រា៖** ការធ្វើធម្មយាត្រានៅវិហារអាល់ហារ៉ម ឯទឹកដីម៉ាក្កះដ៏ពិសិដ្ឋ ដែលជាកាតព្វកិច្ចលើអ្នកមូស្លីមពេញវ័យមានបញ្ញា និងមានលទ្ធភាពគ្រប់គ្រាន់។ ត្រូវមានលទ្ធភាពគ្រប់គ្រាន់ក្នុងការចំណាយសម្រាប់ធ្វើដំណើរទៅ និងត្រលប់មកវិញ។ ការចំណាយនេះ គឺជាទ្រព្យដែលសល់ពីការផ្គត់ផ្គង់ជីវភាពប្រចាំថ្ងៃរបស់គ្រួសារ។ ម្យ៉ាងទៀតចាំបាច់ត្រូវមានសុវត្ថិភាពចំពោះខ្លួនឯងនៅតាមផ្លូវ ហើយមានសុវត្ថិភាពចំពោះអ្នកដែលនៅក្រោមបន្ទុករបស់ខ្លួន ខណៈដែលខ្លួនគេអវត្តមានពីផ្ទះ។ ធម្មយាត្រាគឺជាកាតព្វកិច្ចដែលត្រូវប្រតិបត្តិមួយជីវិតឱ្យបានម្តងចំពោះអ្នកដែលមានលទ្ធភាព។

គប្បីអ្នកដែលចង់ទៅធ្វើធម្មយាត្រា ត្រូវកែខ្លួន សារភាពកំហុសចំពោះអល់ឡោះ ជម្រះសម្អាតខ្លួនពីកម្អែលនៃអំពើបាបជាមុនសិន។ នៅពេលទៅដល់ទឹកដីម៉ាក្កះដ៏ពិសិដ្ឋ ចាំបាច់ត្រូវបំពេញការប្រតិបត្តិធម្មយាត្រាដែលជាការគោរពសក្ការៈ និងជាការលើកតម្កើងចំពោះអល់ឡោះជាម្ចាស់។ អ្នកធ្វើធម្មយាត្រាត្រូវដឹងថា កាក់ហ្ពះ និងអត្តញ្ញាណផ្សេងៗពុំត្រូវបានគេគោរពបូជាក្រៅពីអល់ឡោះជាម្ចាស់នោះទេ។ ពីព្រោះអត្តសញ្ញាណទាំងនោះ ពុំបានផ្តល់ជាប្រយោជន៍ ឬគ្រោះថ្នាក់អ្វីនោះឡើយ។ បើសិនជាអល់ឡោះជាម្ចាស់ពុំបានបង្គាប់ឱ្យទៅធ្វើធម្ម

យាត្រានៅទីនោះទេ គឺអ្នកមូស្លីមមិនត្រូវទៅធ្វើធម្មយាត្រានៅទីនោះឡើយ។

ក្នុងការធ្វើធម្មយាត្រានេះ អ្នកធ្វើធម្មយាត្រាត្រូវស្លៀកពាក់ក្រណាត់ពណ៌ស។ អ្នកមូស្លីមមកទីគ្រប់ទិសទីនៃសកលលោកទៅជួបជុំគ្នានៅកន្លែងតែមួយ។ ពួកគេស្លៀកពាក់តែមួយ គោរពសក្ការៈចំពោះព្រះជាម្ចាស់តែមួយ។ មិនមានការបែងចែកគ្នារវាងអ្នកដឹកនាំ និងប្រជាជនសាមញ្ញ អ្នកមានឬអ្នកក្រ ស្បែកសឬស្បែកខ្មៅ។ ពួកគេទាំងអស់ជាខ្ញុំបម្រើរបស់អល់ឡោះ។ អ្នកមូស្លីមម្នាក់មិនប្រសើរជាងអ្នកមូស្លីមដទៃទៀត លើកលែងតែដោយសេចក្តីកោតខ្លាចចំពោះអល់ឡោះ និងការប្រតិបត្តិអំពើល្អ។

ការធ្វើធម្មយាត្រានេះធ្វើឱ្យអ្នកមូស្លីមទទួលបាននូវការសាមគ្គីគ្នា សហការគ្នា និងស្គាល់គ្នា។ ពួកគេនឹកដល់ថ្ងៃដែលអល់ឡោះជាម្ចាស់នឹងបង្កើតឱ្យពួកគេឱ្យរស់ឡើងវិញទាំងអស់គ្នា។ ទ្រង់នឹងប្រមូលផ្តុំពួកគេក្នុងទីលានតែមួយដើម្បីជំនុំជម្រះ។ ដូច្នេះ ពួកគេនាំគ្នារៀបចំត្រៀមខ្លួនដោយការគោរពប្រតិបត្តិចំពោះអល់ឡោះសម្រាប់ការរស់នៅក្រោយពេលស្លាប់។

# ការគោរពសក្ការៈក្នុងឥស្លាម

ការគោរពសក្ការៈគឺការតាំងខ្លួនជាទាសករសម្រាប់អល់ឡោះ ទាំងអត្ថន័យ និងខ្លឹមសារ។ អល់ឡោះជាអ្នកបង្កើត ហើយអ្នកគឺជាសភាវៈដែលទ្រង់បានបង្កើត។ អ្នកជាអ្នកគោរពសក្ការៈចំពោះអល់ឡោះ ហើយអល់ឡោះគឺជាព្រះដែលអ្នកត្រូវតែគោរពសក្ការៈ។ បើសិនជាដូច្នេះ មនុស្សចាំបាច់ត្រូវធ្វើដំណើរជីវិតរបស់ខ្លួនលើផ្លូវដ៏សុក្រឹតត្រឹមត្រូវរបស់អល់ឡោះ ប្រតិបត្តិតាមច្បាប់បញ្ញត្តិរបស់ទ្រង់ ត្រាប់តាមលំអានអ្នកនាំសាររបស់ទ្រង់។ ពិតណាស់ អល់ឡោះជាម្ចាស់បានដាក់ច្បាប់ដ៏ឧត្តុង្គឧត្តមសម្រាប់មនុស្សលោក ដូចជាត្រូវប្រតិបត្តិឱ្យបានសម្រេចនូវជំនឿឯកទេវៈចំពោះអល់ឡោះ ទ្រង់ជាព្រះជាម្ចាស់នៃសកលលោក ការថ្វាយបង្គំ ការបរិច្ចាគទ្រព្យ ការបួស និងការធ្វើធម្មយាត្រា។



ប៉ុន្តែអត្ថន័យនៃការសក្ការៈក្នុងសាសនាឥស្លាម ពុំមែនមានន័យត្រឹមតែប៉ុណ្ណោះទេ។ ការគោរពសក្ការៈក្នុងឥស្លាមមានអត្ថន័យទូលំទូលាយជាងនេះគឺរាល់ប្រការដែលអល់ឡោះជាម្ចាស់ទ្រង់ស្រលាញ់សព្វព្រះទ័យនៃការប្រតិបត្តិផ្លូវកាយ និងវាចា ទាំងបើកចំហ និងលាក់បាំង ខាងក្រៅ និងក្នុងចិត្ត។ រាល់អំពើឬសម្ដីដែលអ្នកប្រព្រឹត្ត ហើយអល់ឡោះជាម្ចាស់ទ្រង់ស្រលាញ់សព្វព្រះទ័យ គឺគេហៅថាៈ«ការគោរពសក្ការៈ»។ មិនតែប៉ុណ្ណោះ រាល់ទម្លាប់ល្អទាំងឡាយដែលអ្នកបានប្រព្រឹត្តក្នុងបំណងបូជាចំពោះអល់ឡោះគឺជាការគោរពសក្ការៈ។ ការប្រាស្រ័យទាក់ទងល្អជាមួយឪពុកម្ដាយ គ្រួសារ ប្រពន្ធកូន អ្នកជិតខាង

ក្នុងបំណងជ្រះថ្លា ដើម្បីអល់ឡោះក៏ចាត់ទុកជាការគោរពសក្ការៈ។ ការប្រាស្រ័យល្អក្នុងផ្ទះ នៅផ្សារ នៅការិយាល័យធ្វើការក្នុងបំណងជ្រះថ្លាចំពោះអល់ឡោះក៏គេចាត់ទុកជាការគោរពសក្ការៈ។ ការបំពេញទំនុកចិត្ត ការប្រកាន់ខ្ជាប់សេចក្តីស្មោះត្រង់ ភាពយុត្តិធមិ មិនបៀតបៀនអ្នកដទៃ ជួយសង្គ្រោះអ្នកទន់ខ្សោយ ប្រកបរបរចិញ្ចឹមជីវិតដោយសុចរិត ផ្គត់ផ្គង់លុយកាក់ដល់គ្រួសារ កូនចៅ ចេះរំលែកទុក្ខអ្នកក្រីក្រ ទៅសួរសុខទុក្ខអ្នកជំងឺ ផ្តល់ចំណីអាហារដល់អ្នកអត់ឃ្លាន ជួយជនរងគ្រោះដែលត្រូវរងគ្រោះដោយអយុត្តិធមិ។ ទាំងអស់នេះសុទ្ធតែជាការគោរពសក្ការៈបើសិនជាមានបំណងជ្រះថ្លាដើម្បីអល់ឡោះជាម្ចាស់។ រាល់អំពើទាំងឡាយធ្វើដើម្បីខ្លួនឬដើម្បីគ្រួសារឬដើម្បីសង្គមឬដើម្បីប្រទេសជាតិ ក្នុងបំណងជ្រះថ្លាចំពោះអល់ឡោះគឺជាការគោរពសក្ការៈ។ សូម្បីតែការបំពេញចំណង់តណ្ហារបស់ខ្លួន ដោយគោរពតាមច្បាប់របស់អល់ឡោះដែលទ្រង់អនុញ្ញាតនោះក៏ជាការគោរពសក្ការៈដែរ បើសិនណាការប្រព្រឹត្តនោះភ្ជាប់ជាមួយនឹងបំណងល្អ។ អ្នកនាំសារមូហាំម៉ាត់បានមានប្រសាសន៍ថា :

**فقال رسول الله صلى الله عليه وسلم : ( وفي بضع أحدكم صدقة قال قالوا يا رسول الله أيأتي أحدنا شهوته يكون له فيها أجر قال أرأيتم لو وضعها في الحرام أكان عليه فيها وزر وكذلك إذا وضعها في الحلال كان له فيها أجر) مسند الإمام أحمد**

មានន័យថា : *«អង្គជាតិ(ប្រដាប់ភេទ)របស់ពួកអ្នកក៏ស្មើនឹងការដាក់ទានមួយដែរ។ ពួកគេសួរថា : «បពិត្រអ្នកនាំសាររបស់អល់ឡោះ តើគ្រាន់តែរួមដំណេកជាមួយប្រពន្ធក៏មានផលបុណ្យដែរមែនទេ?»។ គាត់បានមានប្រសាសន៍តបវិញថា :« តើអ្នកយល់យ៉ាងម៉េចដែរ? បើ*

*សិនជា គេយកអង្គជាតិរបស់គេទៅដាក់កន្លែងខុសច្បាប់។ តើគេមានបាបទេ? ដូច្នោះដែរ បើសិនជាគេយកទៅដាក់នៅកន្លែងស្របច្បាប់ គឺគេនឹងទទួលបានផលបុណ្យ»។*

អ្នកនាំសារមូហាំម៉ាត់បានមានប្រសាសន៍ទៀតថា ៖

**قال النبي صلى الله عليه وسلم : ( على كل مسلم صدقة قيل أرأيت إن لم يجد ؟ قال يعتمل بيديه فينفع نفسه ويتصدق قال قيل أرأيت إن لم يستطع ؟ قال يعين ذا الحاجة الملهوف قال قيل له أرأيت إن لم يستطع ؟ قال يأمر بالمعروف أو الخير قال أرأيت إن لم يفعل ؟ قال يمسك عن الشر فإنها صدقة ) صحيح مسلم**

មានន័យថា ៖ *«ចាំបាច់លើអ្នកមូស្លីមគ្រប់រូបត្រូវដាក់ទាន។ គេសួរថា ចុះបើសិនជាគេគ្មាន? គាត់បានមានប្រសាសន៍ថា ៖« រិះរកការងារធ្វើខ្លួនឯង ជួយជាប្រយោជន៍សម្រាប់ខ្លួនឯង សេសសល់យកទៅធ្វើទាន»។ គេសួរទៀតថា ចុះបើគេមិនអាចធ្វើបាន តើគេត្រូវធ្វើយ៉ាងម៉េច? គាត់បានមានប្រសាសន៍ថា ៖ «ជួយសង្គ្រោះអ្នកដែលមានទុក្ខលំបាក»។ គេសួរទៀតថា ចុះបើគេមិនអាចទៀត តើគេត្រូវធ្វើដូចម្តេច? គាត់បានមានប្រសាសន៍ថា ៖«ណែនាំគ្នាឱ្យធ្វើល្អ និងហាមឃាត់គ្នាពីអំពើអាក្រក់»។ គេសួរទៀតថា ចុះបើគេធ្វើមិនកើតទៀត តើគេត្រូវធ្វើដូចម្តេច? គាត់បានមានប្រសាសន៍ថា ៖« ឃាត់ខ្លួនឯងកុំឱ្យធ្វើអាក្រក់ក៏ជាការធ្វើទានមួយដែរ»។*

# ទី២ ជំនឿ
# គោលការណ៍មូលដ្ឋានទាំងប្រាំមួយនៃជំនឿគឺ ជឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ ថ្ងៃបរលោក និងព្រះលិខិត

**ជឿចំពោះអល់ឡោះ៖** ត្រូវមានជំនឿចំពោះភាពជាម្ចាស់របស់អល់ឡោះគឺទ្រង់ជាម្ចាស់ដែលជាអ្នកបង្កើត ទ្រង់ជាម្ចាស់កម្មសិទ្ធិ ជាអ្នកចាត់ចែងគ្រប់កិច្ចការទាំងអស់។ ត្រូវមានជំនឿចំពោះភាពជាព្រះរបស់អល់ឡោះដែលត្រូវគេគោរពសក្ការៈ គឺទ្រង់ជាព្រះពិត។ រាល់ព្រះដែលគេគោរពបូជាក្រៅពីទ្រង់គឺខុស។ ត្រូវមានជំនឿចំពោះព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់។ ទ្រង់មានព្រះនាមដ៏ប្រពៃជាច្រើន និងមានព្រះលក្ខណៈសម្បត្តិពេញលេញឧត្តុង្គឧត្តម។

ត្រូវមានជំនឿចំពោះឯកទេវភាពរបស់អល់ឡោះទាក់ទងនឹងការលើកឡើងខាងលើ។ ទ្រង់គ្មានដៃគូរួមចំណែកទាក់ទិននឹងភាពជាម្ចាស់ ភាពជាព្រះ ព្រះនាម និងព្រះលក្ខណៈរបស់ទ្រង់។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ رَّبُّ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَمَا بَيْنَهُمَا فَٱعْبُدْهُ وَٱصْطَبِرْ لِعِبَٰدَتِهِۦ ۚ هَلْ تَعْلَمُ لَهُۥ سَمِيًّا ﴿٦٥﴾ ﴾ سورة مريم: ٦٥

មានន័យថា : *«ទ្រង់ជាម្ចាស់នៃមេឃទាំងប្រាំពីរជាន់ និងផែនដី ហើយទ្រង់ជាម្ចាស់នៃអ្វីៗដែលនៅចន្លោះភពទាំងពីរ។ ចូរអត់ធ្មត់ក្នុងការគោរពសក្ការៈចំពោះទ្រង់។ គ្មានអ្វីអាចដូរព្រះកាយ ព្រះនាម ព្រះលក្ខណៈ និងទង្វើរបស់ទ្រង់ឡើយ»។*

ត្រូវមានជំនឿថា ទ្រង់មិនងងុយដេក ទ្រង់ដឹងជ្រាបពីអាថ៌កំបាំង និងការលាតត្រដាង។ ទ្រង់មានអំណាចនៅលើមេឃ និងនៅលើដី។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَعِندَهُۥ مَفَاتِحُ ٱلۡغَيۡبِ لَا يَعۡلَمُهَآ إِلَّا هُوَۚ وَيَعۡلَمُ مَا فِي ٱلۡبَرِّ وَٱلۡبَحۡرِۚ وَمَا تَسۡقُطُ مِن وَرَقَةٍ إِلَّا يَعۡلَمُهَا وَلَا حَبَّةٍ فِي ظُلُمَٰتِ ٱلۡأَرۡضِ وَلَا رَطۡبٖ وَلَا يَابِسٍ إِلَّا فِي كِتَٰبٖ مُّبِينٖ ٥٩ ﴾ سورة الأنعام: ٥٩

មានន័យថា : *«អល់ឡោះជាម្ចាស់មានកូនសោអាថ៌កំបាំងដែលគ្មាននរណាម្នាក់ដឹង លើកលែងតែទ្រង់។ ទ្រង់ដឹងពីអ្វីដែលនៅលើគោក និងនៅក្នុងសមុទ្រ។ គ្មានស្លឹកឈើណាមួយជ្រុះ លើកលែងតែទ្រង់ដឹង ។ គ្មានគ្រាប់ធញ្ញជាតិណាមួយឋិតនៅក្រោមផ្ទៃងងឹតនៃផែនដី ហើយគ្មានអ្វីដែលស្រស់ និងអ្វីដែលស្ងួត លើកលែងតែមានកត់ត្រាក្នុងបញ្ជីព្រះលិខិតយ៉ាងច្បាស់លាស់»។*

ត្រូវមានជំនឿថា ទ្រង់គង់លើបល្ល័ង្ករបស់ទ្រង់ ខ្ពស់លើសសត្វលោករបស់ទ្រង់ ហើយទ្រង់នៅជាមួយសត្វលោករបស់ព្រះអង្គដោយការដឹងពីស្ថានភាពរស់នៅរបស់ពួកគេ។ ស្តាប់ឮសម្តីរបស់ពួកគេ ទតឃើញទីកន្លែងរបស់ពួកគេ។ ទ្រង់ចាត់ចែងរៀបចំកិច្ចការរបស់ពួកគេ ទ្រង់ផ្តល់លាភសក្ការៈដល់អ្នកទីទ័លក្រ ទ្រង់សង្គ្រោះអ្នកដែលមានគ្រោះថ្នាក់ ទ្រង់ប្រទានអំណាចចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យ ហើយទ្រង់ដកយកអំណាចពីអ្នកដែលទ្រង់សព្វព្រះទ័យចង់ដក។ ទ្រង់មានអំណាច និងមានអានុភាពលើអ្វីគ្រប់យ៉ាង។

**ផលនៃជំនឿមានដូចតទៅ :**

១. ផលនៃជំនឿ គឺធ្វើឱ្យបុគ្គលមានជំនឿស្រលាញ់អល់ឡោះជាម្ចាស់ លើកតម្កើងទ្រង់ ឆ្លើយតប និងប្រតិបត្តិតាមបទបញ្ជារបស់ទ្រង់ ជៀសវាងពីបម្រាមរបស់ទ្រង់។ បើសិនជាបុគ្គលមានជំនឿប្រតិបត្តិបាននូវកាតព្វកិច្ចទាំងពីរនេះ នឹងទទួលបានសុភមង្គលពេញលេញក្នុងលោកនេះ និងនៅថ្ងៃបរលោក។

២. ជំនឿចំពោះអល់ឡោះ បង្កើតឱ្យមានឥស្សរភាព និងសេចក្តីថ្លៃថ្នូរក្នុងខ្លួន ពីព្រោះគេដឹងថា អល់ឡោះគឺជាស្តេច និងជាម្ចាស់កម្មសិទ្ធិពិតប្រាកដ សម្រាប់អ្វីគ្រប់យ៉ាងក្នុងលោកនេះ។ គ្មានអ្នកជួយផ្តល់ផលប្រយោជន៍ ហើយគ្មានអ្នកបង្កគ្រោះថ្នាក់ លើកលែងតែទ្រង់មួយគត់។ ការយល់ដឹងអំពីរឿងនេះ ធ្វើឱ្យគេលែងត្រូវការរំពឹងចំពោះអ្នកផ្សេងក្រៅពីអល់ឡោះ ហើយដកចិត្តភ័យខ្លាចពីអ្នកផ្សេងក្រៅពីអល់ឡោះ។ គេមិនសង្ឃឹមចំពោះអ្នកណាផ្សេងក្រៅពីអល់ឡោះ ហើយគ្មានខ្លាចនរណាម្នាក់ក្រៅពីអល់ឡោះឡើយ។

៣. ជំនឿចំពោះអល់ឡោះ បង្កើតនូវភាពឱនលំទោនក្នុងចិត្តរបស់គេ។ ពីព្រោះគេដឹងថា ពរជ័យគ្រប់យ៉ាងដែលខ្លួនគេមាន គឺមកអំពីអល់ឡោះជាម្ចាស់។ ដូច្នេះបិសាចមិនអាចមកល្បួងគេបានឡើយ។ គេមិនក្រអឺតក្រទម មិនក្អេងក្អាង មិនមានមោទនភាពចំពោះកម្លាំងអំណាច និងទ្រព្យសម្បត្តិរបស់ខ្លួន។

៤. ពិតណាស់ អ្នកមានជំនឿចំពោះអល់ឡោះដឹងយ៉ាងប្រាកដថា គ្មានផ្លូវណាជោគជ័យ និងគ្មានផ្លូវណាអាចជៀសផុតពីទារុណកម្មភ្លើង

នរក ក្រៅពីការប្រតិបត្តិអំពើល្អដែលអល់ឡោះជាម្ចាស់សព្វព្រះទ័យ។ ខណៈដែលអ្នកដទៃមានជំនឿខុសដូចជាជំនឿឈើឆ្កាងជឿថា យេស៊ូ បុត្ររបស់អល់ឡោះ ជឿថាឈើឆ្កាងជាអ្នកលុបលាងអំពើបាបរបស់ខ្លួន ឬមានជំនឿចំពោះព្រះផ្សេងៗទៀត។ គេជឿថាព្រះទាំងនោះអាចធ្វើឱ្យគេសម្រេចគោលបំណង។ តាមពិត ព្រះទាំងនោះគ្មានជួយជាប្រយោជន៍ ហើយក៏គ្មានបង្គ្រោះថ្នាក់អ្វីដែរ។ ឬក៏អ្នកខ្លះទមិឡគ្មានជំនឿ មិនជឿថា មានព្រះជាអ្នកបង្កើតលោកនោះឡើយ។ ទាំងនេះគ្រាន់តែជាក្តីស្រមៃប៉ុណ្ណោះ ពេលពួកគេទៅជួបនឹងអល់ឡោះនៅថ្ងៃបរលោក ទើបពួកគេឃើញច្បាស់នឹងភ្នែក ហើយពួកគេនឹងដឹងថា កាលនៅលោកីយ៍ពួកគេឋិតនៅក្នុងសេចក្តីវង្វេងយ៉ាងពិតប្រាកដ។

៥. ពិតណាស់ ជំនឿចំពោះអល់ឡោះ អប់រំមនុស្សឱ្យមានការប្តេជ្ញាខ្ពស់ និងខ្លាំងក្លាជាទីបំផុតក្នុងការតស៊ូ អត់ធ្មត់ មានជំហររឹងមាំ មានសេចក្តីរំពឹងយ៉ាងមុតមាំស្វែងរកការសព្វព្រះទ័យរបស់អល់ឡោះ នៅពេលដែលរូបគេជួបនឹងកិច្ចការធំដុំក្នុងលោកីយ៍នេះ។ ម្យ៉ាងទៀតគេមានការជឿជាក់យ៉ាងពេញទំហឹងថា ខ្លួនគេកំពុងរំពឹងចំពោះម្ចាស់កម្មសិទ្ធិនៃមេឃទាំងប្រាំពីរជាន់ និងផែនដី។ លើសពីនេះ ខ្លួនគេជឿជាក់ថា ទ្រង់ជាអ្នកគាំទ្រ និងជួយតម្រង់ទិសក្នុងការប្រតិបត្តិរបស់គេ។ ដូច្នេះ គេក្លាយជាមនុស្សដែលរឹងប៉ឹងដូចជាភ្នំ ក្នុងការអត់ធ្មត់ ការរំពឹងទុកក្នុងចិត្ត និងជំហររបស់គេ។

**ជឿចំពោះពួកទេវតា៖** អល់ឡោះជាម្ចាស់បង្កើតពួកគេ ដើម្បីគោរពប្រតិបត្តិចំពោះទ្រង់ ហើយទ្រង់បានពិពណ៌នាអំពីពួកគេថា :

﴿ عِبَادٌ مُّكْرَمُونَ ٢٦ لَا يَسْبِقُونَهُۥ بِٱلْقَوْلِ وَهُم بِأَمْرِهِۦ يَعْمَلُونَ ٢٧ يَعْلَمُ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ وَلَا يَشْفَعُونَ إِلَّا لِمَنِ ٱرْتَضَىٰ وَهُم مِّنْ خَشْيَتِهِۦ مُشْفِقُونَ ٢٨ ﴾

سورة الأنبياء: ٢٦ - ٢٨

មានន័យថាៈ«*ពួកទេវតាជាខ្ញុំបម្រើដ៏ប្រពៃថ្លៃថ្លា។ ពួកគេមិននិយាយមុនទេ លើកលែងតែអ្វីដែលទ្រង់បង្គាប់ប្រើចំពោះពួកគេ ហើយពួកគេប្រតិបត្តិតាមការបង្គាប់ប្រើរបស់ទ្រង់។ ទ្រង់ដឹងពីអ្វីដែលនៅពីមុខពួកគេ និងអ្វីដែលនៅពីក្រោយពួកគេ។ ពួកគេមិនអាចផ្តល់ការសង្គ្រោះ លើកលែងចំពោះអ្នកណាដែលទ្រង់សព្វព្រះទ័យអនុញ្ញាត ហើយពួកគេភ័យញ័រខ្លួន ព្រោះតែខ្លាចទ្រង់*»។

ទ្រង់បានមានព្រះបន្ទូលទៀតថាៈ

﴿ لَا يَسْتَكْبِرُونَ عَنْ عِبَادَتِهِۦ وَلَا يَسْتَحْسِرُونَ ١٩ يُسَبِّحُونَ ٱلَّيْلَ وَٱلنَّهَارَ لَا يَفْتُرُونَ ٢٠ ﴾

سورة الأنبياء: ١٩ - ٢٠

មានន័យថាៈ «*ពួកទេវតាមិនដែលក្រអឺតក្រទមក្នុងការគោរពបូជាចំពោះអល់ឡោះ ហើយពួកគេក៏មិនដែលធុញទ្រាន់ដែរ។ ពួកគេសូត្រធមិតម្កើងទ្រង់ទាំងយប់ទាំងថ្ងៃ ហើយពួកគេមិនដែលធុញទ្រាន់ឡើយ។ អល់ឡោះជាម្ចាស់ទ្រង់បំបាំងពួកគេពីយើង។ ដូច្នេះ យើងមើលមិនឃើញពួកគេនោះទេ។ ជួនកាលពួកទេវតាខ្លះអល់ឡោះទ្រង់អនុញ្ញាតឱ្យពួកណាពី និងពួកអ្នកនាំសាររបស់ទ្រង់មួយចំនួនបានមើលឃើញ*»។

សម្រាប់ពួកគេទេវតា មានកិច្ចការជាច្រើនដែលគេបានដាក់ជាកាតព្វកិច្ចលើពួកគេ។ ក្នុងចំណោមពួកគេមានទេវតាជីព្រីល ជាភ្នាក់ងារទទួលបន្ទុកខាងបញ្ជូនព្រះបន្ទូលអំពីអល់ឡោះ មកឱ្យអ្នកណា

ដែលទ្រង់សព្វព្រះទ័យនៃពួកខ្ញុំបម្រើរបស់ទ្រង់ដែលជាអ្នកនាំសារ។ ទេវតាផ្សេងទៀតជាភ្នាក់ងារទទួលបន្ទុកខាងដកហូតព្រលឹង។ ទេវតាផ្សេងទៀតជាភ្នាក់ងារទទួលបន្ទុកទាក់ទងនឹងគភ៌ក្នុងស្បូនស្ត្រី។ ខ្លះទៀតជាភ្នាក់ងារទទួលបន្ទុករក្សាការពារមនុស្សលោក។ ទេវតាខ្លះជាភ្នាក់ងារទទួលបន្ទុកកត់ត្រាទង្វើ និងសកម្មភាពរបស់មនុស្សលោក។ មនុស្សម្នាក់មានទេវតាពីរអង្គនៅជាមួយ។ ដូចដែលទ្រង់បានមានព្រះបន្ទូលថា :

﴿ عَنِ ٱلْيَمِينِ وَعَنِ ٱلشِّمَالِ قَعِيدٌ ﴿١٧﴾ مَّا يَلْفِظُ مِن قَوْلٍ إِلَّا لَدَيْهِ رَقِيبٌ عَتِيدٌ ﴿١٨﴾ ﴾ سورة ق: ١٧ - ١٨

មានន័យថា : *«ពួកគេទាំងពីរអង្គុយនៅខាងស្តាំងនិងខាងឆ្វេង។ គ្មានសម្តីណាមួយដែលនិយាយចេញមក លើកលែងតែមានពួកទេវតាកំពុងចាំឃ្លាំមើល និងកត់ត្រាទុក»*។

**ផលនៃជំនឿចំពោះពួកទេវតា :**

១. ជំនឿនេះជួយជម្រះសម្អាតគោលជំនឿអ្នកមូស្លីម ពីកម្អែលនៃអំពើពហុទេព និងភាពកខ្វក់របស់វា ពីព្រោះអ្នកមូស្លីមនៅពេលណាមានជំនឿចំពោះពួកទេវតាដែលអល់ឡោះជាម្ចាស់បានដាក់កាតព្វកិច្ចឱ្យបំពេញគឺការជម្រះសម្អាតពីជំនឿដែលជឿថាមានសភាវៈអរូបីដែលរួមចំណែកក្នុងការធ្វើឱ្យចក្រវាលមានដំណើរការ។

២. អ្នកមូស្លីមត្រូវដឹងថា ពួកទេវតាគ្មានអំណាចផ្តល់ជាប្រយោជន៍ ឬបង្កគ្រោះថ្នាក់ដល់មនុស្សឡើយ។ ពួកគេគ្រាន់តែជាខ្ញុំបម្រើរបស់អល់ឡោះដ៏ប្រពៃថ្លៃថ្លា។ ពួកគេមិនប្រព្រឹត្តល្មើសនឹងអ្វីដែលអល់ឡោះជាម្ចាស់បង្គាប់ប្រើចំពោះពួកគេ ហើយពួកគេប្រតិបត្តិចំពោះ

អ្វីដែលទ្រង់បង្គាប់ប្រើ។ អ្នកមូស្លីមពុំត្រូវគោរពសក្ការៈ និងឧទ្ទិស ចំពោះពួកទេវតានោះទេ ហើយក៏មិនត្រូវពឹងផ្អែកចំពោះពួកគេដែរ។

**ជឿចំពោះព្រះគម្ពីរៈ** ត្រូវមានជំនឿថា អល់ឡោះជាម្ចាស់ទ្រង់បាន ប្រទានគម្ពីរជាច្រើនចុះមកចំពោះពួកណាពី និងពួកអ្នកនាំសាររបស់ ទ្រង់ ដើម្បីពន្យល់ បញ្ជាក់ប្រាប់ពីសច្ចភាពរបស់ទ្រង់ និងការអំពាវនាវ ឱ្យមនុស្សគោរពសក្ការៈចំពោះទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ لَقَدۡ أَرۡسَلۡنَا رُسُلَنَا بِٱلۡبَيِّنَٰتِ وَأَنزَلۡنَا مَعَهُمُ ٱلۡكِتَٰبَ وَٱلۡمِيزَانَ لِيَقُومَ ٱلنَّاسُ بِٱلۡقِسۡطِ ﴾سورة الحديد: ٢٥

មានន័យថា : *«ប្រាកដណាស់ យើងបានបញ្ជូនទៅឱ្យពួកអ្នកនាំសារ របស់យើងនូវអំណះអំណាងជាច្រើន ហើយយើងបានប្រទានមក ជាមួយពួកគេនូវព្រះគម្ពីរ និងជញ្ជីងថ្លឹងដើម្បីកាត់សេចក្តីឱ្យមនុស្ស លោកប្រកបដោយយុត្តិធម៌»*។

ព្រះគម្ពីរទាំងនោះមានច្រើនដូចជា គម្ពីររបស់អ៊ីព្រហ៊ីម គម្ពីរតា វរ៉ តរបស់មូសា គម្ពីរហ្សាពួររបស់ដាវូត និងគម្ពីរអិញ្ជីលរបស់យេស៊ូ។

ព្រះគម្ពីរដែលទ្រង់បានត្រាស់បន្ទូលមកសម័យមុនបានបាត់បង់ ច្បាប់ដើម។ គម្ពីររបស់អ៊ីព្រហ៊ីមពុំមានសេសសល់នៅក្នុងលោកនេះ ឡើយ។ គម្ពីរតាវរ៉ត អិញ្ជីល និងហ្សាពួរ ថ្វីបើមានរក្សាឈ្មោះនៅ ជាមួយពួកជ្វីហ្វ និងពួកគ្រឹស្ទាន តែច្បាប់ដើមនៃគម្ពីរទាំងនេះ ត្រូវ បានគេកែប្រែ ផ្លាស់ប្តូរបាត់បង់ច្បាប់ដើមមួយភាគធំ។ គេបានដាក់ បញ្ចូលអត្ថបទខ្លឹមសារដែលមិនមែនជាច្បាប់ដើមរបស់គម្ពីរ តែជា សម្តីរបស់អ្នកផ្សេងក្រៅពីពួកម្ចាស់គម្ពីរ។ គម្ពីរសញ្ញាណចាស់ មាន

ច្រើនជាង៤០ច្បាប់។ ក្នុងនោះមានតែប្រាំច្បាប់ប៉ុណ្ណោះដែលគេសម្អាងថា ជាគម្ពីររបស់មូសា។ ចំណែកគម្ពីរសញ្ញាណថ្មី ដែលមានវត្តមានក្នុងពេលបច្ចុប្បន្ន ពុំមានច្បាប់មួយណាដែលគេសម្អាងថា ជាគម្ពីររបស់យេស៊ូ។

ជំនឿចំពោះព្រះគម្ពីរមុនៗ គឺត្រូវមានជំនឿថា អល់ឡោះជាម្ចាស់ទ្រង់បានប្រទានមកឱ្យពួកអ្នកនាំសាររបស់ទ្រង់ ហើយក្នុងគម្ពីរទាំងនោះ មានចែងអំពីក្បួនច្បាប់ដែលអល់ឡោះជាម្ចាស់ប្រាថ្នាចង់ប្រទានដល់មនុស្សលោកក្នុងសម័យកាលនោះ។

រីឯគម្ពីរចុងក្រោយបង្អស់ដែលអល់ឡោះជាម្ចាស់បានប្រទានចុះមក គឺគម្ពីរអាល់គួរអានដែលទ្រង់បានប្រទានមកឱ្យណាពីមូហាំម៉ាត់។ គម្ពីរនេះនៅតែរក្សាច្បាប់ដើមដដែល ដោយការរក្សា និងអភិរក្សរបស់អល់ឡោះជាម្ចាស់។ គ្មានទទួលរងការកែប្រែ ឬផ្លាស់ប្តូរ សូម្បីតែមួយតួអក្សរ ឬមួយពាក្យ ឬមួយស្រៈ ឬអត្ថន័យរបស់វា។

ភាពខុសគ្នារវាងគម្ពីរអាល់គួរអាន និងគម្ពីរផ្សេងទៀតដែលព្រះបានប្រទានមកពីមុនមកមានច្រើនដូចខាងក្រោមៈ

១. ព្រះគម្ពីរសម័យមុនបាត់បង់ច្បាប់ដើម ហើយត្រូវបញ្ចូលបន្ថែម កែប្រែ និងផ្លាស់ប្តូរ ជាសម្តីអ្នកផ្សេងពុំមែនជាសម្តីម្ចាស់ដើមរបស់វា។ មានបន្ថែមការបកស្រាយ វិចារណ៍ និងការអធិប្បាយ រួមទាំងមានរឿងរ៉ាវជាច្រើនដែលផ្ទុយពីការត្រាស់បន្ទូលរបស់បញ្ញាញាណ និងនិស្ស័យពីធម្មជាតិ។

រីឯគម្ពីរអាល់គួរអានវិញនៅរក្សាច្បាប់ដើមដដែលដោយការអភិរក្ស និងការថែរក្សារបស់អល់ឡោះ។ រក្សាច្បាប់ដើមឱ្យនៅដដែលទាំងតួអក្សរ ពាក្យពេចន៍ដែលអល់ឡោះជាម្ចាស់ទ្រង់បានប្រទានមកឱ្យណាពីមូហាំម៉ាត់។ គម្ពីរនេះមិនទាន់ទទួលរងការកែប្រែ និងការដាក់បន្ថែមឡើយ។ ពីព្រោះអ្នកមូស្លីមយកចិត្តទុកដាក់ចំពោះការអភិរក្សគម្ពីរអាល់គួរអាននេះ ឱ្យនៅស្អាតបរិសុទ្ធ ជៀសវាងពីកម្អែលទាំងឡាយ។ ពួកគេមិនកត់ត្រាលាយឡំគ្នារវាងអត្ថបទគម្ពីរ និងជីវប្រវត្តិរបស់ណាពីមូហាំម៉ាត់ ឬជីវប្រវត្តិពួកសហការីរបស់គាត់ ឬការអធិប្បាយគម្ពីរអាល់គួរអាន ឬក្បួនច្បាប់ទាក់ទងនឹងការគោរពសក្ការៈ និងទំនាក់ទំនងទូទៅ។

២. ពិតណាស់ គម្ពីរសម័យមុន សព្វថ្ងៃនេះគេពុំស្គាល់ពីឯកសារយោងជាប្រវត្តិសាស្ត្រនោះទេ។ គម្ពីរខ្លះគេមិនដឹងថា តើគេបញ្ចុះទៅឱ្យអ្នកណា ហើយគេសរសេរជាភាសាអ្វី? លើសពីនេះ មានផ្នែកខ្លះមិនមែនជាសម្តីរបស់អ្នកដែលបាននាំមក។

រីឯគម្ពីរអាល់គួរអានវិញអ្នកមូស្លីមបានចម្លងពីអ្នកនាំសាររបស់អល់ឡោះដោយការចម្លងបន្តបន្ទាប់គ្នាដោយមាត់ទទេ និងការកត់ត្រា។ សម្រាប់អ្នកមូស្លីមគ្រប់សម័យកាល គ្រប់ទីកន្លែងតែងមានមនុស្សរាប់ពាន់នាក់ទន្ទេញគម្ពីរនេះចាំមាត់ទទេ និងបានបោះពុម្ពរាប់ពាន់ក្បាល។ រាល់ការចម្លងតាមការទន្ទេញ មិនឯកភាពនឹងការចម្លងតាមសំណេរ គឺគេពុំចាត់ទុកជាច្បាប់ចម្លងដែលផ្ទុយនោះទេ។ ចាំបាច់ត្រូវតែឯកភាពគ្នាទាំងស្រុង រវាងការទន្ទេញចាំមាត់ និងសំណេរលើក្រដាស។

លើសពីនេះ គម្ពីរអាល់គួរអានត្រូវបានចម្លងតាមមាត់ ដោយពុំមានគម្ពីរណាក្នុងលោកចម្លងដូច។ គ្មានរូបភាពនៃការចម្លងបែបនេះឡើយ លើកលែងតែប្រជាជាតិរបស់មូហាំម៉ាត់តែប៉ុណ្ណោះ។ របៀបនៃការចម្លងនេះគឺ សិស្សទន្ទេញគម្ពីរអាល់គួរអានជាមួយសាស្ត្រាចារ្យរបស់ខ្លួន ដោយទន្ទេញចាំមាត់ទទេ។ សាស្ត្រាចារ្យនោះត្រូវទន្ទេញចាំតពីសាស្ត្រាចារ្យរបស់គាត់ ក្រោយមកសាស្ត្រាចារ្យនោះ អាចចេញវិញ្ញាបនបត្របញ្ជាក់ឱ្យកូនសិស្សរបស់គាត់។ ក្នុងវិញ្ញាបនបត្រនេះសាស្ត្រាចារ្យរបស់គេបានបញ្ជាក់ថា គាត់បានបង្រៀនកូនសិស្សរបស់គាត់សូត្រតាមអ្វី ដែលសាស្ត្រាចារ្យរបស់គាត់បានបង្រៀនគាត់ពីសាស្ត្រាចារ្យមួយទៅសាស្ត្រាចារ្យមួយទៀតបន្តបន្ទាប់។ ពួកសាស្ត្រាចារ្យទាំងនោះដាក់ឈ្មោះសាស្ត្រាចារ្យរបស់ខ្លួន ដែលមានឯកសារយោងរហូតដល់អ្នកនាំសារមូហាំម៉ាត់ផ្ទាល់តែម្តង។ នេះគឺជាលំដាប់នៃឯកសារយោង ចម្លងតាមមាត់ទទេពីកូនសិស្សម្នាក់ទៅកូនសិស្សម្នាក់រហូតដល់អ្នកនាំសារមូហាំម៉ាត់។



មានអំណះអំណាង និងសាក្សីប្រវត្តិសាស្ត្រជាច្រើនបន្តបន្ទាប់ ជាឯកសារដែលបញ្ជាក់ថា រាល់ជំពូកនីមួយៗ និងរាល់វាក្យខណ្ឌនីមួយៗក្នុងគម្ពីរអាល់គួរអាន សុទ្ធតែមានបញ្ជាក់ប្រាប់ពីទីកន្លែងដែលគេបញ្ចុះ និងពេលវេលាដែលគេបញ្ចុះមកចំពោះសពណាពីមូហាំម៉ាត់។

៣. ពិតណាស់ ភាសាដែលគេបញ្ចុះគម្ពីរសម័យមុនជាភាសាស្លាប់តាំងពីយូរលង់ណាស់មកហើយ។ គ្មាននរណាម្នាក់នៅនិយាយភាសានោះឡើយ។ មានមនុស្សតិចតួចណាស់ដែលយល់ភាសាទាំងនោះក្នុង

សម័យបច្ចុប្បន្ន។ ឯចំណែកភាសាដែលគេបានបញ្ចុះគម្ពីរអាល់គួរអាន វិញ ជាភាសារស់មានមនុស្សរាប់សិបលាននាក់កំពុងនិយាយ។ ជាភាសាដែលគេសិក្សា គេរៀនសូត្រនៅគ្រប់តំបន់ទាំងអស់ក្នុងលោកនេះ។ អ្នកដែលមិនចេះភាសានេះ ក៏មានអ្នកផ្សេងទៀតចេះ អាចពន្យល់ពីអត្ថន័យខ្លឹមសារនៃគម្ពីរអាល់គួរអានដល់អ្នកនោះនៅគ្រប់ទីកន្លែង។

៤.គម្ពីរបុរាណគេបញ្ចុះមកសម្រាប់សម័យកាលដោយឡែកៗពីគ្នា។ គេបញ្ជូនមកចំពោះតែប្រជាជាតិណាមួយដោយឡែក ពុំមែនសម្រាប់មនុស្សទូទៅនោះទេ។ ដូច្នេះ ទើបក្នុងគម្ពីរទាំងនោះមានចែងតែក្បួនច្បាប់ដោយឡែកសម្រាប់ប្រជាជាតិណាមួយជាកំណត់ និងសម្រាប់សម័យកាលណាមួយជាក់លាក់។ ហេតុនេះ គម្ពីរបុរាណសម័យមុន មិនសក្តិសមសម្រាប់មនុស្សទូទៅនោះទេ។

រីឯគម្ពីរអាល់គួរអានគឺជាគម្ពីរដែលពេញលេញ មានសុពលភាពសម្រាប់គ្រប់សម័យកាល សក្តិសមសម្រាប់គ្រប់ទីកន្លែង មានចែងពីក្បួនច្បាប់ ទំនាក់ទំនង សីលធម៌ដែលមានប្រសិទ្ធភាពសម្រាប់គ្រប់ប្រជាជាតិ សម្រាប់គ្រប់សម័យកាល ពីព្រោះសេចក្តីថ្លែងក្នុងគម្ពីរនេះអំពាវនាវទៅកាន់មនុស្សលោកទូទៅ។

តាមរយៈការបកស្រាយនេះបង្ហាញឱ្យឃើញថា គម្ពីរដែលគ្មានច្បាប់ដើមគឺមិនអាចក្លាយជាភស្តុតាងរបស់អល់ឡោះចំពោះមនុស្សលោក។ នៅលើភពផែនដីនេះ ពុំមានអ្នកដែលនិយាយភាសាដែលគេសរសេរគម្ពីរទាំងនោះទេ បន្ទាប់ពីគេកែប្រែរួច។ ក៏ប៉ុន្តែគម្ពីរដែលជាភស្តុតាងរបស់អល់ឡោះចំពោះមនុស្សលោកគឺជាគម្ពីរដែលគេបាន

អភិរក្សដោយសុវត្ថិភាពគ្មានការដាក់បញ្ចូលបន្ថែម លុបចោល និងកែប្រែឡើយ។ ច្បាប់ចម្លងនៃគម្ពីរនេះមានគ្រប់ទីកន្លែង សរសេរជាភាសារស់ មានមនុស្សរាប់លាននាក់កំពុងនិយាយភាសានេះ ហើយកំពុងបញ្ជូនសាររបស់អល់ឡោះទៅកាន់មនុស្សលោកទាំងមូល។ នោះគឺជាគម្ពីរអាល់គួរអានដ៏ឧត្តម ដែលអល់ឡោះជាម្ចាស់ប្រទានមកឱ្យណាពីមូហាំម៉ាត់។ ជាគម្ពីរដែលគ្របដណ្តប់លើគម្ពីរមនុ៧បញ្ជាក់ពីសច្ចភាព និងជាសាក្សីរបស់គម្ពីរមុនៗ។ ជាគម្ពីរដែលចាំបាច់លើមនុស្សលោកទាំងឡាយត្រូវតែប្រតិបត្តិតាម ដើម្បីជាពន្លឺ ជាថ្នាំព្យាបាល ជាមគ្គុទេសក៏ ជាការមេត្តាសម្រាប់ពួកគេ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَهَٰذَا كِتَٰبٌ أَنزَلۡنَٰهُ مُبَارَكٞ فَٱتَّبِعُوهُ وَٱتَّقُواْ لَعَلَّكُمۡ تُرۡحَمُونَ ١٥٥ ﴾ سورة الأنعام: ١٥٥

មានន័យថា : «*គម្ពីរនេះយើងបានប្រទានចុះមកជាពរជ័យ ចូរប្រតិបត្តិតាមគម្ពីរនេះ និងកោតខ្លាចចុះ។ សង្ឃឹមថា ពួកអ្នកនឹងត្រូវបានគេអាណិតស្រលាញ់*»។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ قُلۡ يَٰٓأَيُّهَا ٱلنَّاسُ إِنِّي رَسُولُ ٱللَّهِ إِلَيۡكُمۡ جَمِيعًا ﴾ سورة الأعراف: ١٥٨

មានន័យថា : «*មូហាំម៉ាត់ចូរអ្នកប្រសាសន៍ថា នៃមនុស្សលោកទាំងឡាយ ពិតណាស់ខ្ញុំជាអ្នកនាំសាររបស់អល់ឡោះទៅកាន់ពួកអ្នកទាំងអស់គ្នា*»។

**ជំនឿចំពោះពួកអ្នកនាំសារៈ** ពិតណាស់ អល់ឡោះជាម្ចាស់បានបញ្ជូនពួកអ្នកនាំសារទៅកាន់មនុស្សលោក ដើម្បីផ្សាយដំណឹងល្អស្តីអំពីបរម

សុខក្នុងឋានសួគ៌ បើសិនជាពួកគេមានជំនឿចំពោះអល់ឡោះ និងមានជំនឿចំពោះពួកអ្នកនាំសារ។ ដាស់តឿនពួកគេឱ្យប្រុងប្រយ័ត្នពីទារុណកម្ម បើសិនជាពួកគេប្រឆាំងជំទាស់មិនព្រមជឿ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَقَدۡ بَعَثۡنَا فِي كُلِّ أُمَّةٖ رَّسُولًا أَنِ ٱعۡبُدُواْ ٱللَّهَ وَٱجۡتَنِبُواْ ٱلطَّٰغُوتَ ﴾ سورة النحل: ٣٦

មានន័យថា : *«ប្រាកដណាស់ យើងបានបញ្ជូនមកកាន់គ្រប់ប្រជាជាតិនីមួយៗនូវអ្នកនាំសារម្នាក់ ដើម្បីអំពាវនាវឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះ និងបោះបង់ការគោរពបូជាបិសាច ជំនឿអរូបី និងរូបសំណាកផ្សេងៗ»*។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ رُّسُلٗا مُّبَشِّرِينَ وَمُنذِرِينَ لِئَلَّا يَكُونَ لِلنَّاسِ عَلَى ٱللَّهِ حُجَّةُۢ بَعۡدَ ٱلرُّسُلِۚ وَكَانَ ٱللَّهُ عَزِيزًا حَكِيمٗا ﴿١٦٥﴾ ﴾ سورة النساء: ١٦٥

មានន័យថា : *«យើងបានបញ្ជូនពួកអ្នកនាំសារមក ដើម្បីផ្តល់ដំណឹងល្អនៃផលបុណ្យរបស់យើង និងដាស់តឿនពីទារុណកម្មរបស់យើង ដើម្បីកុំឱ្យពួកមនុស្សមានលេស បន្ទាប់ពីបញ្ជូនពួកអ្នកនាំសារ។ ពិតណាស់អល់ឡោះជាម្ចាស់ទ្រង់មានអំណាចខ្លាំងក្លា និងប្រកបដោយគតិបណ្ឌិតក្នុងការរៀបចំចាត់ចែងរបស់ទ្រង់»*។

ពួកអ្នកនាំសាររបស់អល់ឡោះមានច្រើន។ អ្នកនាំសារដំបូងបង្អស់គឺណួស ហើយអ្នកនាំសារចុងក្រោយបង្អស់គឺណាពីមូហាំម៉ាត់។ អ្នកនាំសារខ្លះអល់ឡោះបន្ទូលប្រាប់ ដូចជាអ៊ីព្រហ៊ីម មូសា អ៊ីសា

ដាវូត យ៉ះយ៉ា ហ្សាការីយ៉ា និងសឡេះ។ ពួកអ្នកនាំសារខ្លះទៀតទ្រង់ពុំបានបន្ទូលប្រាប់។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ وَرُسُلًا قَدۡ قَصَصۡنَٰهُمۡ عَلَيۡكَ مِن قَبۡلُ وَرُسُلًا لَّمۡ نَقۡصُصۡهُمۡ عَلَيۡكَ ﴾سورة النساء: ١٦٤

មានន័យថា : *«ពួកអ្នកនាំសារខ្លះ យើងពិតជាបាននិទានប្រាប់អ្នកអំពីពួកគេ ហើយពួកអ្នកនាំសារខ្លះយើងពុំបាននិទានប្រាប់អ្នកអំពីពួកគេនោះទេ»។*

ពួកអ្នកនាំសារទាំងនោះ សុទ្ធជាតែជាមនុស្សលោក ជាសត្វលោករបស់អល់ឡោះ។ ពួកគេមិនមានចំណែកលក្ខណៈពិសេសណាមួយរួមជាមួយនឹងព្រះជាម្ចាស់ ឬពួកគេមិនមែនជាព្រះនោះទេ។ គេពុំត្រូវឧទ្ទិសការគោរពបូជាណាមួយដល់ពួកអ្នកនាំសារទាំងនោះឡើយ។ ពួកគាត់គ្មានសិទ្ធិផ្តល់ជាប្រយោជន៍ ឬការពារគ្រោះថ្នាក់សម្រាប់ខ្លួនពួកគាត់នោះទេ។ អល់ឡោះជាម្ចាស់ បានមានព្រះបន្ទូលអំពីណួសដែលជាអ្នកនាំសារដំបូងបង្អស់ បាននិយាយទៅកាន់សាសនីរបស់គាត់ថា :

﴿ وَلَآ أَقُولُ لَكُمۡ عِندِي خَزَآئِنُ ٱللَّهِ وَلَآ أَعۡلَمُ ٱلۡغَيۡبَ وَلَآ أَقُولُ إِنِّي مَلَكٞ ﴾ سورة هود: ٣١

មានន័យថា : *«ខ្ញុំពុំបានប្រាប់ពួកអ្នកថា ខ្ញុំមានឃ្លាំងសម្បត្តិរបស់អល់ឡោះ ខ្ញុំដឹងរឿងអាថ៌កំបាំង ហើយខ្ញុំជាទេវតានោះដែរ»។*

ណួសបានបន្តថា :

﴿ لَّآ أَمۡلِكُ لِنَفۡسِي نَفۡعٗا وَلَا ضَرًّا إِلَّا مَا شَآءَ ٱللَّهُ ﴾ سورة الأعراف: ١٨٨

មានន័យថា : *«ខ្ញុំមិនមានសិទ្ធិកាន់កាប់ផលប្រយោជន៍សម្រាប់រូបខ្ញុំផ្ទាល់ ហើយក៏គ្មានសិទ្ធិបង្កគ្រោះថ្នាក់ លើកលែងតែអ្វីដែលអល់ឡោះទ្រង់សព្វព្រះទ័យតែប៉ុណ្ណោះ»។*

ពួកអ្នកនាំសារ ឬពួកណាពី គឺជាបម្រើរបស់ព្រះដ៏ឧត្តុង្គឧត្តម។ ទ្រង់បានជ្រើសរើស និងលើកតម្កើងពួកគេ ដោយព្រះរាជសាររបស់ទ្រង់។ ទ្រង់ហៅពួកគេថា «ខ្ញុំបម្រើ»របស់ទ្រង់។ ពួកគេកាន់សាសនាឥស្លាម ហើយអល់ឡោះមិនទទួលស្គាល់សាសនាណាមួយក្រៅពីឥស្លាមជាដាច់ខាត។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّ ٱلدِّينَ عِندَ ٱللَّهِ ٱلۡإِسۡلَٰمُ ﴾ سورة آل عمران: ١٩

មានន័យថា : *«ពិតណាស់ សាសនាដែលអល់ឡោះជាម្ចាស់ទទួលស្គាល់គឺសាសនាឥស្លាម»។*

សាររបស់ពួកគេមានការឯកភាពគ្នាលើគោលការណ៏គ្រឹះ ហើយមានភាពខុសប្លែកពីគ្នាទាក់ទិននឹងក្បួនច្បាប់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ لِكُلّٖ جَعَلۡنَا مِنكُمۡ شِرۡعَةٗ وَمِنۡهَاجٗا ﴾ سورة المائدة: ٤٨

មានន័យថា :*«ប្រាកដណាស់សម្រាប់រាល់ប្រជាជាតិនិមួយៗយើងបានបង្កើតក្បួនច្បាប់ និងផ្លូវយ៉ាងច្បាស់លាស់ដែលពួកគេនាំគ្នាប្រតិបត្តិ»។*

ក្បួនច្បាប់ចុងក្រោយបង្អស់ គឺក្បួនច្បាប់របស់ណាពីមូហាំម៉ាត់។ ក្បួនច្បាប់នេះ លុបចោលនូវក្បួនច្បាប់សម័យបុរាណ ហើយសាររបស់គាត់គឺជាសារចុងក្រោយបង្អស់។ រូបគាត់គឺជាអ្នកនាំសារចុងក្រោយបង្អស់ផងដែរ។

អ្នកណាមានជំនឿចំពោះណាពីណាមួយ ចាំបាច់ត្រូវមានជំនឿចំពោះពួកណាពីទាំងអស់។ នរណាបដិសេធចំពោះណាពីណាម្នាក់ប្រាកដណាស់ អ្នកនោះហាក់ដូចជាបដិសេធចំពោះណាពីទាំងឡាយ

ដែរ ពីព្រោះពួកអ្នកនាំសារ និងពួកណាពីទាំងឡាយអំពាវនាវមនុស្ស ទៅរកជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ និង ជឿចំពោះថ្ងៃបរលោក។ សាសនារបស់ពួកគេ គឺជាសាសនាតែមួយ។ ចំពោះអ្នកដែលបែងចែងរវាងពួកគេ ឬមានជំនឿចំពោះអ្នកនាំសារខ្លះ ហើយបដិសេធចំពោះអ្នកនាំសារដទៃទៀត។ បានសេចក្តីថា គេបដិសេធនឹងពួកអ្នកនាំសារទាំងអស់ ពីព្រោះពួកអ្នកនាំសារទាំងនោះអំពាវនាវទៅរកជំនឿចំពោះពួកណាពី និងពួកអ្នកនាំសារទាំងឡាយ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ ءَامَنَ ٱلرَّسُولُ بِمَآ أُنزِلَ إِلَيۡهِ مِن رَّبِّهِۦ وَٱلۡمُؤۡمِنُونَۚ كُلٌّ ءَامَنَ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ وَكُتُبِهِۦ وَرُسُلِهِۦ لَا نُفَرِّقُ بَيۡنَ أَحَدٖ مِّن رُّسُلِهِۦۚ ﴿٢٨٥﴾ ﴾ سورة البقرة: ٢٨٥

មានន័យថា :«*អ្នកនាំសារមូហាំម៉ាត់មានជំនឿចំពោះអ្វីដែលព្រះជាម្ចាស់របស់គេបានប្រទានចុះមក ហើយពួកអ្នកមានជំនឿទាំងឡាយក៏មានជំនឿអ៊ីចឹងដែរ។ ពួកគេទាំងអស់មានជំនឿចំពោះអល់ឡោះ ពួកទេវតា ព្រះគម្ពីរ ពួកអ្នកនាំសារ។ ពួកយើងមិនបែងចែកនរណាម្នាក់ក្នុងចំណោមពួកអ្នកនាំសារទាំងនោះឡើយ*»។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ إِنَّ ٱلَّذِينَ يَكۡفُرُونَ بِٱللَّهِ وَرُسُلِهِۦ وَيُرِيدُونَ أَن يُفَرِّقُواْ بَيۡنَ ٱللَّهِ وَرُسُلِهِۦ وَيَقُولُونَ نُؤۡمِنُ بِبَعۡضٖ وَنَكۡفُرُ بِبَعۡضٖ وَيُرِيدُونَ أَن يَتَّخِذُواْ بَيۡنَ ذَٰلِكَ سَبِيلًا ﴿١٥٠﴾ ﴾ سورة النساء: ١٥٠

មានន័យថា : «*ពិតណាស់ ពួកអ្នកដែលគ្មានជំនឿចំពោះអល់ឡោះ គ្មានជំនឿចំពោះពួកអ្នកនាំសាររបស់ទ្រង់ ពួកគេចង់បែងចែករវាង*

*អល់ឡោះ និងពួកអ្នកនាំសាររបស់ទ្រង់។ ពួកគេនិយាយថា : « ពួកយើងមានជំនឿចំពោះពួកអ្នកនាំសារមួយចំនួន ហើយពួកយើងមិនជឿចំពោះពួកគេមួយចំនួនផ្សេងទៀត»។ ពួកគេចង់បង្កើតផ្លូវថ្មីមួយដែលនាំទៅរកសេចក្តីវង្វេង»។*

**ជឿចំពោះថ្ងៃបរលោកៈ** គឺជាថ្ងៃទីបញ្ចប់នៃសត្វលោកទាំងឡាយនៅក្នុងលោកិយ៍នេះ គឺសេចក្តីស្លាប់។ ក្រោយពេលស្លាប់ តើវាសនារបស់មនុស្សនឹងទៅជាយ៉ាងណា? តើអ្វីជាលទ្ធផលនៃពួកអ្នកប្រព្រឹត្តអំពើអយុត្តិធម៌ ដែលបានរួចទោសក្នុងលោកិយ៍នេះ? តើនៅថ្ងៃនោះ ពួកគេអាចរួចផុតពីទោសនៃអំពើអយុត្តិធម៌របស់ពួកគេទេ? អ្នកធ្វើល្អដែលបាត់បង់គុណសម្បត្តិ និងផលតបស្នងអំពើល្អរបស់ពួកគេក្នុងលោកិយ៍នេះ តើនៅថ្ងៃនោះនឹងត្រូវគេលួចបន្លំបានទៀតទេ?

ពិតណាស់ មនុស្សលោកបានទៅរកសេចក្តីស្លាប់ជាបន្តបន្ទាប់ ពីមួយជំនាន់ទៅមួយជំនាន់ រហូតដល់អល់ឡោះជាម្ចាស់អនុញ្ញាតឱ្យលោកិយ៍នេះផុតរលត់។ សត្វលោកទាំងឡាយ ត្រូវវិនាសមហន្តរាយពីលើភពផែនដីនេះ។ អល់ឡោះជាម្ចាស់នឹងបង្កើតសត្វលោកទាំងអស់ឱ្យរស់ឡើងវិញនៅថ្ងៃជំនុំជម្រះ។ អល់ឡោះជាម្ចាស់បង្កើតមនុស្សជំនាន់មុន និងមនុស្សជំនាន់ក្រោយឱ្យរស់ឡើងវិញ។ បន្ទាប់មកទ្រង់នឹងជំនុំជម្រះពួកគេ តាមអំពើរបស់ពួកគេល្អ ឬអាក្រក់ដែលពួកគេបានសាងក្នុងលោកិយ៍នេះ។ ពួកអ្នកមានជំនឿនឹងត្រូវនាំទៅកាន់ឋានសួគ៌ ហើយពួកអ្នកគ្មានជំនឿនឹងត្រូវអូសទៅកាន់ឋាននរក។

ឋានសួគ៌គឺជាទីបរមសុខដែលអល់ឡោះជាម្ចាស់បានរៀបចំត្រៀមសម្រាប់ពួកអ្នកដែលមានជំនឿ។ ក្នុងឋានសួគ៌នេះមានប្រភេទនៃបរមសុខផ្សេងៗគ្នាដែលគ្មាននរណាម្នាក់អាចធ្វើការពិពណ៌នាបានឡើយ។ ក្នុងឋានសួគ៌នេះមានមួយរយជាន់។ ជាន់នីមួយៗ មានមនុស្សរស់នៅតាមកម្រិតនៃជំនឿ និងការប្រតិបត្តិរបស់ពួកគេចំពោះអល់ឡោះ។ អ្នករស់នៅឋានសួគ៌ជាន់ទាបបំផុត គឺស្មើនឹងការសោយសុខរបស់ស្តេចផែនដីយើងនេះទ្វេជាដប់។

ឋាននរកគឺជាកន្លែងដាក់ទារុណកម្មដែលអល់ឡោះជាម្ចាស់រៀបចំត្រៀមសម្រាប់ពួកអ្នកដែលគ្មានជំនឿ។ ក្នុងឋាននរកមានទារុណកម្មគ្រប់រូបភាពដែលមិនអាចពណ៌នាបាន។ បើសិនជាអល់ឡោះជាម្ចាស់ទ្រង់អនុញ្ញាតឱ្យអ្នកណាម្នាក់ស្លាប់នៅថ្ងៃបរលោក គឺអ្នករស់នៅឋាននរកនឹងស្លាប់ ដោយគ្រាន់តែមើលឃើញវា។



ប្រាកដណាស់ អល់ឡោះដឹងជ្រាបដោយចំណេះដឹងពីបុព្វេរបស់ទ្រង់នូវអ្វីដែលមនុស្សនឹងនិយាយ ការប្រព្រឹត្តល្អ និងអាក្រក់ ដោយកំបាំង ឬបើកចំហ។ ទ្រង់បានដាក់ទេវតាពីរអង្គជាភ្នាក់ងារ។ ម្នាក់កត់ត្រាអំពើល្អ ហើយម្នាក់ទៀតកត់ត្រាអំពើអាក្រក់។ គ្មានអ្វីដែលត្រូវរបូតចេញពីពួកគេទាំងពីរអង្គនោះឡើយ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ مَّا يَلۡفِظُ مِن قَوۡلٍ إِلَّا لَدَيۡهِ رَقِيبٌ عَتِيدٞ ﴾ سورة ق: - ١٨

មានន័យថា : *«គ្មានសម្តីណាមួយដែលនិយាយចេញមក លើកលែងតែមានទេវតាកំពុងចាំឃ្លាំមើល និងកត់ត្រាទុក»។*

ទេវតាកត់ត្រាទង្វើរបស់មនុស្សក្នុងបញ្ជីមួយទុកជូនឱ្យមនុស្សលោកវិញនៅថ្ងៃបរលោក។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَوُضِعَ ٱلْكِتَٰبُ فَتَرَى ٱلْمُجْرِمِينَ مُشْفِقِينَ مِمَّا فِيهِ وَيَقُولُونَ يَٰوَيْلَتَنَا مَالِ هَٰذَا ٱلْكِتَٰبِ لَا يُغَادِرُ صَغِيرَةً وَلَا كَبِيرَةً إِلَّآ أَحْصَىٰهَا ۚ وَوَجَدُوا۟ مَا عَمِلُوا۟ حَاضِرًا ۗ وَلَا يَظْلِمُ رَبُّكَ أَحَدًا ﴿٤٩﴾ ﴾ سورة الكهف: ٤٩

មានន័យថា : *«គេបានដាក់បញ្ជីកត់ត្រារបស់មនុស្សម្នាក់ៗក្នុងដៃស្តាំឬដៃឆ្វេងរបស់គេ។ ពួកអ្នកប្រព្រឹត្តអំពើឧក្រិដ្ឋមានការភ័យខ្លាចចំពោះអ្វីដែលមានក្នុងបញ្ជី ដោយសារអំពើបាបដែលពួកគេបានសាង។ ពួកគេនិយាយថា :«វិនាសហើយយើង!តើនេះជាបញ្ជីអ្វី? គ្មានចន្លោះអ្វីសោះឡើយ។ ទាំងតូចទាំងធំនៃទង្វើរបស់យើងត្រូវបានកត់ត្រាចូលទាំងអស់»។ ពួកគេប្រទះឃើញអ្វី ដែលពួកគេបានធ្វើនៅក្នុងលោកីយ៍នេះមានវត្តមាននៅនឹងមុខ។ ព្រះជាម្ចាស់របស់អ្នកមិនប្រព្រឹត្តអយុត្តិធម៌ចំពោះនរណាម្នាក់ សូម្បីប៉ុនអាតូម»។*



មនុស្សលោកនឹងអានបញ្ជីរបស់ខ្លួន។ គ្មាននរណាម្នាក់ហ៊ានប្រកែកនោះទេ។ បើសិនជានរណាហ៊ានប្រកែកចំពោះអំពើរបស់ខ្លួនអល់ឡោះនឹងឱ្យត្រចៀក ភ្នែក ដៃទាំងពីរ ជើងទាំងពីរ និងស្បែករបស់គេនិយាយប្រាប់ពីទង្វើរបស់ពួកគេ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَيَوْمَ يُحْشَرُ أَعْدَآءُ ٱللَّهِ إِلَى ٱلنَّارِ فَهُمْ يُوزَعُونَ ﴿١٩﴾ حَتَّىٰٓ إِذَا مَا جَآءُوهَا شَهِدَ عَلَيْهِمْ سَمْعُهُمْ وَأَبْصَٰرُهُمْ وَجُلُودُهُم بِمَا كَانُوا۟ يَعْمَلُونَ ﴿٢٠﴾ وَقَالُوا۟ لِجُلُودِهِمْ لِمَ شَهِدتُّمْ عَلَيْنَا ۖ قَالُوٓا۟ أَنطَقَنَا ٱللَّهُ ٱلَّذِىٓ أَنطَقَ كُلَّ شَىْءٍ وَهُوَ خَلَقَكُمْ أَوَّلَ مَرَّةٍ وَإِلَيْهِ تُرْجَعُونَ ﴿٢١﴾ وَمَا كُنتُمْ تَسْتَتِرُونَ أَن يَشْهَدَ

عَلَيْكُمْ سَمْعُكُمْ وَلَآ أَبْصَٰرُكُمْ وَلَا جُلُودُكُمْ وَلَٰكِن ظَنَنتُمْ أَنَّ ٱللَّهَ لَا يَعْلَمُ كَثِيرًا مِّمَّا تَعْمَلُونَ ﴿٢٢﴾ ﴾
سورة فصلت: ١٩ - ٢٢

មានន័យថា ៖ *«ថ្ងៃដែលគេប្រមូលសត្រូវរបស់អល់ឡោះទៅកាន់ឋាននរក។ ទេវតាទារុណកម្មបានឃុំឃាំងពួកគេពីអ្នកទីមួយរហូតដល់អ្នកចុងក្រោយបង្អស់។ លុះពួកគេមកដល់ភ្លើងនរក ពួកគេនាំគ្នាប្រកែកជំទាស់ ហើយត្រចៀក ភ្នែក និងស្បែករបស់ពួកគេធ្វើសាក្សីលើកំហុសរបស់ខ្លួនឯង។ ពួកគេនិយាយទៅកាន់ស្បែកថា ៖«ហេតុអ្វីបានពួកឯងធ្វើសាក្សីលើយើង?»។ ស្បែកឆ្លើយថា ៖«អល់ឡោះដែលធ្វើឱ្យអ្វីៗសព្វបែបយ៉ាងចេះនិយាយគឺទ្រង់ធ្វើឱ្យយើងចេះនិយាយ»។ ទ្រង់គឺជាអ្នកដែលបានបង្កើតពួកអ្នកតាំងពីដំបូង ហើយពួកអ្នកត្រូវវិលត្រលប់ទៅរកទ្រង់វិញ។ កាលនៅលោកិយ៍ ពួកអ្នកបានលាក់បាំងអំពើបាបរបស់ពួកអ្នក ខ្លាចត្រចៀក ភ្នែក ស្បែករបស់ពួកអ្នកធ្វើសាក្សីលើពួកអ្នក។ ក៏ប៉ុន្តែពួកអ្នកនឹកស្មានថា អល់ឡោះទ្រង់មិនដឹងជ្រាបអំពីអ្វីភាគច្រើនដែលពួកអ្នកបានធ្វើ»។*

ជំនឿនឹងថ្ងៃបរលោកគឺជាថ្ងៃបំផ្លាញលោក ថ្ងៃរស់ឡើងវិញដែលពួកអ្នកនាំសារ និងពួកណាពីទាំងអស់បាននាំដំណឹងនេះមកប្រាប់មនុស្សលោក។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ وَمِنْ ءَايَٰتِهِۦٓ أَنَّكَ تَرَى ٱلْأَرْضَ خَٰشِعَةً فَإِذَآ أَنزَلْنَا عَلَيْهَا ٱلْمَآءَ ٱهْتَزَّتْ وَرَبَتْ ۚ إِنَّ ٱلَّذِىٓ أَحْيَاهَا لَمُحْىِ ٱلْمَوْتَىٰٓ ۚ إِنَّهُۥ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿٣٩﴾ ﴾ سورة فصلت: ٣٩

មានន័យថា ៖ *«អំពីសញ្ញាភស្តុតាងរបស់ទ្រង់ គឺអ្នកមើលឃើញដីដែលស្ងួតហួតហែងក្រៀមក្រោះគ្មានរុក្ខជាតិ នៅពេលដែលយើងបាន*

*ប្រទានទឹកភ្លៀងចុះមក ស្រាប់តែមានរុក្ខជាតិដុះដាល និងលូតលាស់ឡើង។ ពិតណាស់ អ្នកដែលធ្វើឱ្យផែនដីរស់ឡើងវិញដោយរុក្ខជាតិ គឺជាអ្នកដែលបង្កើតសាកសពឱ្យរស់ឡើងវិញ។ ទ្រង់គឺជាព្រះដែលមានអានុភាពលើអ្វីគ្រប់យ៉ាង»។*

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَوَلَمْ يَرَوْا أَنَّ اللَّهَ الَّذِي خَلَقَ السَّمَاوَاتِ وَالْأَرْضَ وَلَمْ يَعْيَ بِخَلْقِهِنَّ بِقَادِرٍ عَلَىٰ أَن يُحْيِيَ الْمَوْتَىٰ ﴾ سورة الأحقاف: ٣٣

មានន័យថា :«*តើពួកគេឃើញទេ? ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតមេឃទាំងប្រាំពីរជាន់ និងផែនដី ហើយទ្រង់មិនអសមត្ថភាពក្នុងការបង្កើតអ្វីៗទាំងអស់នេះទេ។ ទ្រង់មានអំណាចក្នុងការបង្កើតសាកសពឱ្យរស់ឡើងវិញ»។*

ទ្រង់បង្កើតសត្វលោកតម្រូវតាមគតិបណ្ឌិតរបស់ទ្រង់។ ពិតណាស់ អល់ឡោះទ្រង់មិនបង្កើតសត្វលោកមក ដោយឥតប្រយោជន៍នោះទេ។ ទ្រង់ក៏ពុំទុកពួកគេចោលទទេៗនោះដែរ។ សូម្បីតែមនុស្សល្ងង់ខ្លៅ នៅពេលគេធ្វើអ្វីមួយសំខាន់ គឺគេមិនធ្វើដោយគ្មានគោលបំណង និងគោលដៅនោះឡើយ។ ហេតុអ្វីបានជាមនុស្សមិនគិតពីរឿងនេះ? ហេតុអ្វីបានមនុស្សគិតថា ព្រះជាម្ចាស់បង្កើតគេមក ដោយឥតប្រយោជន៍ ទុកពួកគេចោលទទេៗ។ ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់ស្អាតស្អំពីអ្វីដែលមនុស្សគិតស្មានចំពោះទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ أَفَحَسِبْتُمْ أَنَّمَا خَلَقْنَاكُمْ عَبَثًا وَأَنَّكُمْ إِلَيْنَا لَا تُرْجَعُونَ ﴿١١٥﴾ ﴾ سورة المؤمنون: ١١٥

មានន័យថា : *«តើពួកអ្នកគិតថា យើងបានបង្កើតពួកអ្នកទទេៗឥតប្រយោជន៍ ហើយពួកអ្នកមិនវិលត្រលប់ទៅរកយើងវិញទេឬ?»*។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿وَمَا خَلَقْنَا ٱلسَّمَآءَ وَٱلْأَرْضَ وَمَا بَيْنَهُمَا بَٰطِلًا ۚ ذَٰلِكَ ظَنُّ ٱلَّذِينَ كَفَرُوا۟ ۚ فَوَيْلٌ لِّلَّذِينَ كَفَرُوا۟ مِنَ ٱلنَّارِ ﴿٢٧﴾﴾

سورة ص: ٢٧

មានន័យថា : *«យើងពុំបានបង្កើតមេឃទាំងប្រាំពីរជាន់ និងផែនដី និងអ្វីដែលនៅចន្លោះភពទាំងពីរ ដោយឥតប្រយោជន៍នោះទេ។ នោះគឺជាការនឹកស្មានរបស់ពួកអ្នកដែលគ្មានជំនឿតែប៉ុណ្ណោះ។ សេចក្តីវិនាសមហន្តរាយនៃភ្លើងនរក គឺសម្រាប់ពួកអ្នកដែលគ្មានជំនឿ»*។

ពួកអ្នកមានប្រាជ្ញាទាំងឡាយ សុទ្ធតែធ្វើសាក្សីចំពោះសេចក្តីជំនឿ ហើយជំនឿជាកត្តាចាំបាច់សម្រាប់ប្រាជ្ញា និងនិស្ស័យពីកំណើតក៏បានទទួលស្គាល់ពីជំនឿនេះ។ ពីព្រោះមនុស្សលោក នៅពេលមានជំនឿចំពោះថ្ងៃបរលោក គេនឹងយល់ថា ហេតុផលដែលគេត្រូវបោះបង់ចោលនូវអ្វីដែលខ្លួនត្រូវបោះបង់ ហើយប្រតិបត្តិនូវអ្វីដែលខ្លួនត្រូវប្រតិបត្តិ ដោយសង្ឃឹមចំពោះការតបស្នងរបស់អល់ឡោះ។ ម៉្យាងទៀតគេយល់ថា អ្នកប្រព្រឹត្តអយុត្តិធមិទៅលើមនុស្សនឹងត្រូវទទួលទោស ហើយជនរងគ្រោះនឹងទទួលសំណងពីគេវិញនៅថ្ងៃបរលោក។ ពិតណាស់ មនុស្សលោកត្រូវតែទទួលផលរបស់ខ្លួន។ ធ្វើល្អបានល្អ ធ្វើអាក្រក់បានអាក្រក់។ ជីវិតគ្រប់រូបនឹងទទួលបានការតបស្នងតាមអ្វីដែលខ្លួនបានសាង។ នៅពេលនោះយុត្តិធមិរបស់ព្រះបានកើតឡើងជាក់ស្តែង។

ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ فَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٍ خَيۡرٗا يَرَهُۥ ٧ وَمَن يَعۡمَلۡ مِثۡقَالَ ذَرَّةٖ شَرّٗا يَرَهُۥ ٨ ﴾

سورة الزلزلة: ٧ - ٨

មានន័យថា ៖ *«នរណាធ្វើល្អប៉ុនសត្វស្រមោចនឹងឃើញផលល្អរបស់ខ្លួន ហើយនរណាធ្វើអាក្រក់ប៉ុនសត្វស្រមោចនឹងឃើញផលអាក្រក់របស់ខ្លួន»*។

គ្មានសត្វលោកណាម្នាក់របស់ទ្រង់ដឹងពីពេលវេលានៃការកើតថ្ងៃបរលោកនោះទេ។ ថ្ងៃនោះគ្មាននណាពីណាម្នាក់ដឹង ហើយទេវតាដែលនៅជិតទ្រង់ក៏មិនដឹងដែរ។ ប៉ុន្តែជាចំណេះដឹងពិសេសរបស់អល់ឡោះទ្រង់តែមួយគត់ដឹងពីរឿងនេះ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ يَسۡـَٔلُونَكَ عَنِ ٱلسَّاعَةِ أَيَّانَ مُرۡسَىٰهَاۖ قُلۡ إِنَّمَا عِلۡمُهَا عِندَ رَبِّيۖ لَا يُجَلِّيهَا لِوَقۡتِهَآ إِلَّا هُوَ ﴾

سورة الأعراف: ١٨٧

មានន័យថា ៖ *«ពួកគេសួរអ្នកអំពីថ្ងៃបរលោក តើពេលណាទើបថ្ងៃនោះមកដល់? មូហាំម៉ាត់ ចូរអ្នកប្រាប់ពួកគេចុះថា៖« ពិតណាស់ចំណេះដឹងទាក់ទងនឹងរឿងថ្ងៃបរលោកមានតែព្រះជាម្ចាស់របស់ខ្ញុំមួយគត់ដែលទ្រង់ដឹង។ ទ្រង់មិនបង្ហាញឱ្យនរណាម្នាក់ដឹងពីពេលវេលានោះទេ លើកលែងតែព្រះអង្គឯង»*។

**ជំនឿចំពោះព្រះលិខិតៈ** ត្រូវតែមានជំនឿថា អល់ឡោះជាម្ចាស់ទ្រង់ដឹងជ្រាបពីអ្វីដែលបានកើតឡើង និងអ្វីដែលនឹងកើតឡើង។ ទ្រង់ដឹងពីស្ថានភាពសត្វលោក ការងារ អាយុជីវិត និងជីវភាពរស់នៅរបស់ពួកគេ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ إِنَّ ٱللَّهَ بِكُلِّ شَيۡءٍ عَلِيمٌ ٦٢ ﴾ سورة العنكبوت: ٦٢

មានន័យថា :«*ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់ដឹងជ្រាបពីអ្វីៗគ្រប់យ៉ាង*»។

ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ وَعِندَهُۥ مَفَاتِحُ ٱلۡغَيۡبِ لَا يَعۡلَمُهَآ إِلَّا هُوَۚ وَيَعۡلَمُ مَا فِي ٱلۡبَرِّ وَٱلۡبَحۡرِۚ وَمَا تَسۡقُطُ مِن وَرَقَةٍ إِلَّا يَعۡلَمُهَا وَلَا حَبَّةٖ فِي ظُلُمَٰتِ ٱلۡأَرۡضِ وَلَا رَطۡبٖ وَلَا يَابِسٍ إِلَّا فِي كِتَٰبٖ مُّبِينٖ ٥٩ ﴾ سورة الأنعام: ٥٩

មានន័យថា :«*អល់ឡោះជាម្ចាស់មានកូនសោអាថ៌កំបាំងដែលគ្មាននរណាម្នាក់ដឹង លើកលែងតែទ្រង់។ ទ្រង់ដឹងពីអ្វីដែលនៅលើគោក និងនៅក្នុងសមុទ្រ។ គ្មានស្លឹកឈើណាមួយជ្រុះ លើកលែងតែទ្រង់ដឹង។ គ្មានគ្រាប់ធញ្ញជាតិណាមួយឋិតនៅក្រោមផ្ទៃងងឹតនៃផែនដី ហើយគ្មានអ្វីដែលស្រស់ និងអ្វីដែលស្ងួត លើកលែងតែមានចារទុកក្នុងបញ្ជីព្រះលិខិតយ៉ាងច្បាស់លាស់*»។



អល់ឡោះជាម្ចាស់បានកត់ត្រាអ្វីៗគ្រប់យ៉ាងក្នុងបញ្ជីព្រះលិខិត។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَكُلَّ شَيۡءٍ أَحۡصَيۡنَٰهُ فِيٓ إِمَامٖ مُّبِينٖ ١٢ ﴾ سورة يس: ١٢

មានន័យថា : «*អ្វីគ្រប់យ៉ាងយើងបានកត់ត្រាទុកក្នុងបញ្ជីព្រះលិខិត*»។

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលទៀតថា :

﴿ أَلَمۡ تَعۡلَمۡ أَنَّ ٱللَّهَ يَعۡلَمُ مَا فِي ٱلسَّمَآءِ وَٱلۡأَرۡضِۗ إِنَّ ذَٰلِكَ فِي كِتَٰبٍۚ إِنَّ ذَٰلِكَ عَلَى ٱللَّهِ يَسِيرٞ ٧٠ ﴾ سورة الحج: ٧٠

មានន័យថា : *«នែមូហាំម៉ាត់! តើអ្នកមិនដឹងទេឬថា អល់ឡោះជ្រាបដឹងយ៉ាងច្បាស់លាស់អំពីអ្វីៗដែលនៅលើមេឃ និងនៅលើផែនដី? ប្រាកដណាស់ ទ្រង់បានកត់ត្រាទុកក្នុងបញ្ជីព្រះលិខិត។ ពិតណាស់ រឿងនេះងាយស្រួលបំផុតចំពោះអល់ឡោះជាម្ចាស់»។*

បើសិនជាអល់ឡោះជាម្ចាស់សព្វព្រះទ័យបង្កើតអ្វីមួយ ទ្រង់គ្រាន់តែពោលថា :«ចូរកើត!» នោះវាក៏កើតឡើងភ្លាមៗតែម្តង។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿إِنَّمَآ أَمۡرُهُۥٓ إِذَآ أَرَادَ شَيۡـًٔا أَن يَقُولَ لَهُۥ كُن فَيَكُونُ ٨٢﴾ سورة يس: ٨٢

មានន័យថា *:«ពិតណាស់ កិច្ចការរបស់ទ្រង់ បើសិនជាទ្រង់សព្វព្រះទ័យនឹងអ្វីមួយ គ្រាន់តែទ្រង់មានបន្ទូលថា :«ចូរកើត!» នោះវានឹងកើតឡើងភ្លាមៗតែម្តង»។*

ទ្រង់បានចារកំណត់ចំពោះអ្វីគ្រប់យ៉ាង គឺទ្រង់ជាអ្នកបង្កើតពួកវាទាំងនោះផងដែរ។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ٱللَّهُ خَٰلِقُ كُلِّ شَيۡءٖ﴾ سورة الزمر: ٦٢

មានន័យថា : *«អល់ឡោះជាម្ចាស់ ជាអ្នកបង្កើតអ្វីគ្រប់យ៉ាង»។*

ទ្រង់បង្កើតមនុស្សលោកមកដើម្បីគោរពសក្ការៈចំពោះទ្រង់។ ទ្រង់បានបកស្រាយប្រាប់ពួកគេពីការគោរពសក្ការៈនេះ ហើយបង្គាប់ពួកគេឱ្យប្រតិបត្តិ។ ទ្រង់បានហាមឃាត់ពួកគេពីការប្រព្រឹត្តអំពើបាប ហើយទ្រង់បានបកស្រាយប្រាប់ពួកគេពីអំពើបាបទាំងនោះ។ ទ្រង់បានប្រទានដល់ពួកគេនូវកម្លាំងពលំ សមត្ថភាព និងចំណង់ចំណូលចិត្ត ដែលពួកគេអាចបំពេញបទបញ្ជារបស់អល់ឡោះដើម្បីឱ្យពួកគេទទួល

បានផលបុណ្យ។ ម៉្យាងទៀតជនណាប្រព្រឹត្តល្មើសនឹងបទបញ្ជារបស់ទ្រង់ គឺត្រូវទទួលទារុណកម្ម។

នៅពេលមនុស្សមានជំនឿចំពោះព្រះលិខិតគឺនឹងទទួលបានផលដូចខាងក្រោមៈ

១. ការពឹងផ្អែកចំពោះអល់ឡោះនៅពេលប្រតិបត្តិការងារដែលជាបច្ច័យ ព្រោះគេដឹងថា ហេតុឬបច្ច័យ និងអ្នកបង្កបច្ច័យ គឺអាស្រ័យដោយព្រះលិខិត និងការកំណត់របស់អល់ឡោះ។

២. ទទួលបានសេចក្តីសុខ និងភាពស្កប់ស្កល់ក្នុងចិត្ត នៅពេលដែលគេដឹងថា អ្វីៗកើតឡើងដោយព្រះលិខិតរបស់អល់ឡោះ។ ពិតណាស់ ផលអាក្រក់ទាំងឡាយដែលជាវាសនាបានកំណត់គឺវានឹងកើតឡើងមិនអាចប្រកែកបាន។ ដូច្នេះខ្លួនរបស់គេមិនមានខ្វល់ខ្វាយហើយព្រមទទួលនូវការកំណត់របស់អល់ឡោះ។ គ្មានជីវិតរស់នៅរបស់នរណាម្នាក់មានសុភមង្គល មានសេចក្តីសុខ និងស្កប់ស្កល់ជាងអ្នកដែលមានជំនឿចំពោះព្រះលិខិត។




៣. ជម្រះភាពអំនួតចេញពីខ្លួន បន្ទាប់ពីធ្វើអ្វីមួយបានសម្រេចដូចបំណង ពីព្រោះការទទួលបានសម្រេច គឺជាពរជ័យអំពីអល់ឡោះតាមអ្វីដែលទ្រង់បានកំណត់នូវហេតុជាបច្ច័យនៃសេចក្តីល្អ និងភាពជោគជ័យ។

៤. ជម្រះរាល់ការបារម្ភខ្វល់ខ្វាយ និងការខកបំណង នៅពេលធ្វើអ្វីមួយពុំបានសម្រេចដូចបំណង ឬកើតគ្រោះអាក្រក់ផ្សេងៗ ពីព្រោះថារឿងទាំងនោះអាស្រ័យដោយព្រះលិខិតរបស់អល់ឡោះបានកំណត់

ដែលគ្មានអ្វីប្រឆាំងជំទាស់នឹងបទបញ្ជារបស់ទ្រង់ឡើយ ហើយគ្មានជនណាអាចដេញដោលចំពោះការសម្រេចរបស់ទ្រង់។ ព្រះលិខិតរបស់ទ្រង់ត្រូវតែកើត មិនអាចប្រកែកបាន។ ដូច្នេះអ្នកមានជំនឿនឹងព្រះលិខិតគឺចេះអត់ធ្មត់ និងប្រាថ្នាចង់បានផលបុណ្យអំពីអល់ឡោះជាម្ចាស់។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ مَآ أَصَابَ مِن مُّصِيبَةٍ فِي ٱلۡأَرۡضِ وَلَا فِيٓ أَنفُسِكُمۡ إِلَّا فِي كِتَٰبٖ مِّن قَبۡلِ أَن نَّبۡرَأَهَآۚ إِنَّ ذَٰلِكَ عَلَى ٱللَّهِ يَسِيرٞ ٢٢ لِّكَيۡلَا تَأۡسَوۡاْ عَلَىٰ مَا فَاتَكُمۡ وَلَا تَفۡرَحُواْ بِمَآ ءَاتَىٰكُمۡۗ وَٱللَّهُ لَا يُحِبُّ كُلَّ مُخۡتَالٖ فَخُورٍ ٢٣ ﴾ سورة الحديد: ٢٢ - ٢٣

មានន័យថា : *«គ្មានគ្រោះថ្នាក់អ្វីមួយកើតឡើងនៅលើផែនដីនេះ ហើយក៏គ្មានគ្រោះថ្នាក់អ្វីមួយកើតឡើងចំពោះខ្លួនរបស់ពួកអ្នក លើកលែងតែមានចារក្នុងបញ្ជីព្រះលិខិតមុននឹងយើងបង្កើតវាឡើង។ ពិតណាស់ រឿងនោះងាយស្រួលបំផុតចំពោះអល់ឡោះ។ នេះគឺដើម្បីកុំឱ្យពួកអ្នកកើតទុក្ខចំពោះអ្វីដែលពួកអ្នកបានបាត់បង់ ហើយដើម្បីកុំឱ្យអ្នកសប្បាយក្អាកក្អាយចំពោះអ្វីដែលពួកអ្នកទទួលបានសម្រេច។ អល់ឡោះជាម្ចាស់ទ្រង់មិនសព្វព្រះទ័យចំពោះអ្នកដែលក្រអឺតក្រទមក្អេងក្អាងនោះឡើយ»*។

៥. ពឹងផ្អែកទាំងស្រុងទៅលើអល់ឡោះជាម្ចាស់ ពីព្រោះអ្នកមូស្លីមដឹងថា អល់ឡោះជាម្ចាស់តែមួយគត់ ទ្រង់មានអំណាចអាចប្រទានផលប្រយោជន៍ និងបង្កគ្រោះថ្នាក់។ មិនត្រូវខ្លាចអំណាចនរណាម្នាក់នោះទេ មិនត្រូវស្ទាក់ស្ទើរចំពោះការប្រតិបត្តិអំពើល្អដោយសារខ្លាច

នរណាម្នាក់ដែលជាមនុស្សដូចគ្នាឡើយ។ អ្នកនាំសារមូហាំម៉ាត់បាន មានប្រសាសន៍ទៅកាន់អ៊ិបនូអាពើសថា ៖

قال رسول الله صلى الله عليه وسلم لابن عباس رضي الله عنهما: ( واعلم أن الأمة لو اجتمعت على أن ينفعوك بشيء لم ينفعوك إلا بشيء قد كتبه الله لك ولو اجتمعواعلى أن يضروك بشيء لم يضروك إلا بشيء قد كتبه الله عليك ) سنن الترمذي.

មានន័យថា ៖ *«ចូរអ្នកជ្រាបថា បើសិនជាមនុស្សជាតិទាំងអស់ប្រមូលផ្តុំគ្នាចង់ជួយជាប្រយោជន៍អ្វីមួយដល់ឯងគឺពួកគេមិនអាចជួយបានជាដាច់ខាត លើកលែងតែអ្វីដែលអល់ឡោះទ្រង់បានចារសម្រាប់ឯង។ ម្យ៉ាងទៀត បើសិនជាពួកគេប្រមូលផ្តុំគ្នាចង់បង្គ្រោះថ្នាក់អ្វីមួយដល់ឯងគឺពួកគេមិនអាចបង្គ្រោះថ្នាក់ដល់ឯងជាដាច់ខាត លើកលែងតែអ្វីដែលអល់ឡោះបានចារទៅលើឯង»។*

## ទី៣ កុសលធម៌(អៀសសាន)

អៀសសានមូលដ្ឋានគ្រឹះតែមួយគត់គឺអ្នកត្រូវតែគោរពសក្ការៈចំពោះអល់ឡោះដូចដែលអ្នកឃើញទ្រង់។ បើសិនជាអ្នកមិនឃើញទ្រង់ គឺទ្រង់ទតឃើញអ្នក។ មនុស្សលោកត្រូវតែគោរពសក្ការៈចំពោះទ្រង់ក្នុងលក្ខណៈដូចខាងលើនេះ។ ក្នុងពេលគោរពសក្ការៈអ្នកត្រូវមានអារម្មណ៍ដឹងថា ខ្លួននៅក្បែរទ្រង់ នៅចំពោះមុខទ្រង់។ លក្ខណៈបែបនេះ នាំឱ្យអ្នកប្រតិបត្តិមានការកោតខ្លាច ការលើកតម្កើង ហើយប្រតិបត្តិដោយសុទ្ធចិត្ត និងលះបង់កម្លាំងកាយចិត្តក្នុងការប្រតិបត្តិឱ្យបានល្អប្រសើរជាទីបំផុត។

មនុស្សចាំបាច់ត្រូវដឹងពីការឃ្លាំមើលរបស់ព្រះជាម្ចាស់ក្នុងពេលកំពុងប្រតិបត្តិ។ ត្រូវមានអារម្មណ៍នៅក្បែរទ្រង់ហាក់ដូចជាខ្លួនគេឃើញព្រះអង្គ។ បើសិនជាគេពិបាកនឹងប្រតិបត្តិ គេត្រូវបួងសួងសុំជំនួយ ដើម្បីឱ្យទ្រង់ជួយសម្រេចជំនឿរបស់គេដែលជឿថា អល់ឡោះទ្រង់ទតឃើញ ហើយដឹងពីអាការៈក្នុងចិត្ត និងអាការៈខាងក្រៅរបស់គេ។ គ្មានអ្វីលាក់បាំងនឹងទ្រង់ឡើយ។

អ្នកមានជំនឿឈានដល់កម្រិតនេះ គឺគេគោរពសក្ការៈចំពោះអល់ឡោះដោយសទ្ធាជ្រះថ្លា មិនងាកទៅរកអ្វីផ្សេងក្រៅពីទ្រង់នោះឡើយ។ មិនទន្ទឹងរង់ចាំការសរសើរពីមនុស្សលោក មិនខ្លាចការស្តីបន្ទោសរបស់មនុស្ស ពីព្រោះគេគិតថា ព្រះជាម្ចាស់របស់គេសព្វព្រះទ័យ និងសរសើររូបគេ គឺគ្រប់គ្រាន់ណាស់សម្រាប់រូបគេ។

គេក្លាយជាមនុស្សម្នាក់ ដែលអាការៈខាងក្រៅរបស់គេមានតុល្យភាពជាមួយនឹងអាការៈខាងក្នុង។ គេជាអ្នកប្រតិបត្តិចំពោះព្រះជាម្ចាស់ទាំងពេលនៅម្នាក់ឯង និងពេលនៅក្នុងចំណោមមនុស្ស។ គេមានជំនឿជឿជាក់យ៉ាងពេញលេញថា អល់ឡោះទ្រង់ទតឃើញអ្វីដែលគេលាក់ទុកក្នុងចិត្ត និងអ្វីដែលខ្លួនគេគិត។ ជំនឿបានត្រួតត្រាលើចិត្តគំនិតរបស់គេ។ គេតែងមានអារម្មណ៍ដឹងពីការឃ្លាំមើលរបស់អល់ឡោះចំពោះរូបគេ។ ដូច្នេះគេបានប្រគល់រូបកាយរបស់គេជូនចំពោះអល់ឡោះជាម្ចាស់។ រូបកាយរបស់គេមិនប្រតិបត្តិទេ លើកលែងតែការប្រតិបត្តិនោះ អល់ឡោះទ្រង់ស្រលាញ់ និងសព្វព្រះទ័យ ហើយស្តាប់បង្គាប់ចំពោះព្រះជាម្ចាស់ជានិច្ច។

ដោយសារចិត្តរបស់គេរំពឹងចំពោះព្រះជាម្ចាស់។ ដូច្នេះ គេមិនសុំជំនួយពីមនុស្សលោកដូចគ្នា និងមិនត្អូញត្អែរប្រាប់មនុស្សលោកដូចគ្នា ពីព្រោះគេរំពឹងចំពោះអល់ឡោះតែមួយគត់ ក្នុងការបំពេញតម្រូវការ ហើយមានទ្រង់ជាអ្នកជួយគាំទ្រ គឺគ្រប់គ្រាន់សម្រាប់គេ។ ទោះជាគេនៅទីណា គេគ្មានអារម្មណ៍ឯកោ ហើយគេមិនដែលខ្លាចនរណាម្នាក់ឡើយ។ ពីព្រោះគេដឹងថា អល់ឡោះនៅជាមួយរូបគេក្នុងគ្រប់ស្ថានភាពទាំងអស់។ ទ្រង់ជាទីពំនឹង និងជាអ្នកជួយគាំទ្ររូបគេដ៏ប្រសើរជាទីបំផុត។ រាល់ការប្រតិបត្តិដែលអល់ឡោះទ្រង់បង្គាប់ប្រើ គេមិនដែលបោះបង់ចោលនោះឡើយ។ គេមិនដែលប្រព្រឹត្តបទល្មើសចំពោះអល់ឡោះ ពីព្រោះគេខ្មាសអល់ឡោះនៅពេលដែលទ្រង់ទតមិនឃើញរូបគេនៅទីដែលទ្រង់បានបង្គាប់ប្រើ ហើយគេមិនចង់ឱ្យទ្រង់ទតឃើញ



គេនៅទីដែលទ្រង់បានហាមឃាត់។ គេមិនរំលោភបំពាន និងប្រព្រឹត្ត អំពើអយុត្តិធម៌ចំពោះមនុស្សណាម្នាក់ឡើយ។ ពីព្រោះគេដឹងថា អល់ឡោះកំពុងទតឃើញរូបគេ ហើយទ្រង់នឹងជំនុំជម្រះទង្វើរបស់គេ។ គេមិនបង្កអំពើវិនាសកម្មបំផ្លិចបំផ្លាញនៅលើភពផែនដីនេះ។ ពីព្រោះគេដឹងថា សេចក្ដីល្អសព្វបែបយ៉ាងនៅលើភពផែនដីនេះ សុទ្ធតែជាកម្មសិទ្ធិរបស់អល់ឡោះជាម្ចាស់។ ទ្រង់ប្រទានមកជាជំនួយសម្រាប់ផ្តល់ជាផលប្រយោជន៍ដល់សត្វលោកទាំងមូល។ ដូច្នេះ គេទាញយកផលប្រយោជន៍ពីភពផែនដីតាមតម្រូវការរបស់គេ ហើយគេដឹងគុណចំពោះអល់ឡោះដែលទ្រង់បានប្រទានដល់ពួកគេ។

អ្វីដែលខ្ញុំបានលើកឡើង និងបានបង្ហាញជូនក្នុងសៀវភៅនេះ ជាប្រការសំខាន់ និងជាមូលដ្ឋានគ្រឹះដ៏ឧត្ដមរបស់សាសនាឥស្លាម។ មូលដ្ឋានគ្រឹះទាំងនេះ បើសិនជានរណាម្នាក់មានជំនឿ និងប្រតិបត្តិតាម គឺគេក្លាយជាមូស្លីម។ សាសនាឥស្លាម គឺដូចដែលខ្ញុំបានលើកឡើងខាងលើ ជាសាសនា និងជាអាណាចក្រ ជាការគោរពសក្ការៈ និងជាផ្លូវជីវិត។ ឥស្លាមជាប្រព័ន្ធច្បាប់ដ៏សុក្រឹតពេញលេញរបស់ព្រះមានចែងពីអ្វីៗសព្វបែបយ៉ាងដែលបុគ្គល និងសង្គមត្រូវការសម្រាប់គ្រប់វិស័យទាំងអស់នៃជីវិតជំនឿ នយោបាយ សេដ្ឋកិច្ច សង្គមកិច្ច និងសន្តិភាព។ សាសនាឥស្លាមនឹងធ្វើឱ្យមនុស្សយល់ដឹងអំពីទ្រឹស្ដីគោល មូលដ្ឋានគ្រឹះក្បួនច្បាប់ដែលរៀបចំកិច្ចការសន្តិភាព និងកិច្ចការសង្គ្រាម សិទ្ធិ និងកាតព្វកិច្ច។ រក្សាការពារសេចក្ដីថ្លៃថ្នូររបស់មនុស្ស រក្សាសិទ្ធិសត្វបក្សាបក្សី សត្វគ្រប់ប្រភេទ បរិស្ថានជុំវិញខ្លួន។ ឥស្លាមនឹងបញ្ជាក់ប្រាប់ពី

ធាតុពិតរបស់មនុស្ស ជីវិត សេចក្ដីស្លាប់ ការរស់ឡើងវិញក្រោយពេលស្លាប់។ ម៉្យាងវិញទៀត ឥស្លាមគឺជាមាគ៌ាគំរូដ៏សុក្រឹត សម្រាប់ទាក់ទងជាមួយមនុស្សនៅជុំវិញខ្លួន។ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ وَقُولُواْ لِلنَّاسِ حُسۡنًا ﴾ سورة البقرة: ٨٣

មានន័យថា :*«ចូរពួកអ្នកនិយាយពាក្យកុសលធម៌ទៅកាន់មនុស្សលោកទាំងឡាយ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَٱلۡعَافِينَ عَنِ ٱلنَّاسِ ﴾ سورة آل عمران: ١٣٤

មានន័យថា : *«អ្នកដែលអត់ឱនចំពោះមនុស្សលោក ពេលខ្លួនគេមានអំណាចអាចចាត់ការគេបាន»។*

អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَا يَجۡرِمَنَّكُمۡ شَنَـَٔانُ قَوۡمٍ عَلَىٰٓ أَلَّا تَعۡدِلُواْۚ ٱعۡدِلُواْ هُوَ أَقۡرَبُ لِلتَّقۡوَىٰ ﴾ سورة المائدة: ٨

មានន័យថា : *«ចូរអ្នកកុំធ្វើឱ្យបាត់បង់ភាពយុត្តិធម៌ ព្រោះតែការស្អប់របស់មនុស្សមួយក្រុម។ ចូរប្រតិបត្តិអំពើយុត្តិធម៌ជាមួយពួកសត្រូវ និងមិត្តរបស់ខ្លួនឱ្យបានស្មើភាពគ្នា។ ពីព្រោះភាពយុត្តិធម៌គឺនៅជិតបំផុតនឹងការកោតខ្លាចចំពោះអល់ឡោះ»។*

ក្រោយពីបានពន្យល់បកស្រាយពីឋានានុក្រមសាសនា និងមូលដ្ឋានគ្រឹះតាមលំដាប់នីមួយៗរួចមក ខ្ញុំសូមលើកឡើងសង្ខេបពីគុណសម្បត្តិរបស់សាសនាឥស្លាម។

# គុណសម្បត្តិសាសនាឥស្លាម

ចុងស្លាបប៉ាកការអសមត្ថភាពនឹងសរសេរពិពណ៌នាឱ្យអស់សេចក្តីអំពីគុណសម្បត្តិរបស់សាសនាឥស្លាម ហើយគ្មានលទ្ធភាពនឹងបរិយាយឱ្យអស់សេចក្តី អំពីតម្លៃនៃសាសនាឥស្លាម។ ដោយសារសាសនានេះគឺជាសាសនារបស់អល់ឡោះ ដូចដែលចក្ខុរបស់មនុស្សមិនអាចមើលឃើញអល់ឡោះ ឬមនុស្សមិនអាចយល់ដឹងពីទ្រង់ដោយចំណេះដឹងរបស់គេ។ ក៏ដូចគ្នាដែរច្បាប់បញ្ញត្តិរបស់ទ្រង់ គ្មានស្លាបប៉ាកកាណាអាចពិពណ៌នាឱ្យអស់សេចក្តីបានដែរ។ អិបនូ កៃយ៉ុមបាននិយាយថា ប្រសិនបើអ្នកត្រិះរិះពិចារណាអំពីគតិបណ្ឌិតដ៏អស្ចារ្យនៅក្នុងសាសនាដ៏ត្រឹមត្រូវនេះ និងក្បួនច្បាប់របស់អ្នកនាំសារមូហាំម៉ាត់ គ្មានអ្វីអាចពិពណ៌នាអំពីសុក្រឹតភាព គ្មានអ្វីអាចពិពណ៌នាពីសោភ័ណភាពរបស់ឥស្លាម ហើយគ្មានអ្នកប្រាជ្ញណាអាចរិះគន់បាន បើទោះជាពួកគេទាំងនោះរួមគំនិតគ្នាយ៉ាងណាក៏ដោយ។ ប្រាជ្ញារបស់អ្នកប្រាជ្ញ ក៏យល់ដឹងអំពីសោភ័ណភាពនៃក្បួនច្បាប់នេះ ហើយពួកគេបានធ្វើសាក្សីចំពោះតម្លៃនេះផងដែរ។ បើសិនជាអ្នកនាំសារពុំបាននាំភស្តុតាងមកបញ្ជាក់អំពីសច្ចភាពនៃក្បួនច្បាប់នេះ ក៏ក្បួនច្បាប់នេះខ្លួនឯង គ្រប់គ្រាន់ជាភស្តុតាង ជានិមិត្តសញ្ញា និងជាសាក្សីបញ្ជាក់ថា ក្បួនច្បាប់នេះ ពិតជាមកអំពីអល់ឡោះជាម្ចាស់ប្រាកដមែន។ ក្បួនច្បាប់ទាំងមូលជាសាក្សីបញ្ជាក់អំពីសុក្រឹតភាពពេញលេញនៃចំណេះដឹង និងគតិបណ្ឌិត ភាពទូលំទូលាយពោរពេញដោយក្តីមេត្តា សេចក្តីល្អ និងកុសលធម៌។ វាពិតជាយល់ដឹងពីរឿងអាថ៌កំបាំង និងរឿងលោកីយ៍ជាក់ស្តែង។ ការមាន

ពុទ្ធិយល់ដឹងអំពីគោលការណ៍នានា និងលទ្ធផលចុងក្រោយ។ ក្បួនច្បាប់នេះ គឺជាពរជ័យដ៏ឧត្តមបំផុតដែលទ្រង់បានប្រទានមកចំពោះមនុស្សលោក។ គ្មានពរជ័យណាប្រសើរជាងការដែលទ្រង់ចង្អុលបង្ហាញឱ្យពួកគេយល់ពីក្បួនច្បាប់នេះឡើយ។ ទ្រង់បង្កើតពួកគេជាម្ចាស់ក្បួនច្បាប់នេះ ហើយជាអ្នកដែលពេញចិត្តនឹងក្បួនច្បាប់នេះ។ ដូច្នេះទើបទ្រង់ប្រទានការយល់ដឹងអំពីក្បួនច្បាប់នេះដល់មនុស្សលោក។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ لَقَدْ مَنَّ ٱللَّهُ عَلَى ٱلْمُؤْمِنِينَ إِذْ بَعَثَ فِيهِمْ رَسُولًا مِّنْ أَنفُسِهِمْ يَتْلُوا۟ عَلَيْهِمْ ءَايَٰتِهِۦ وَيُزَكِّيهِمْ وَيُعَلِّمُهُمُ ٱلْكِتَٰبَ وَٱلْحِكْمَةَ وَإِن كَانُوا۟ مِن قَبْلُ لَفِى ضَلَٰلٍ مُّبِينٍ ﴿١٦٤﴾ ﴾ سورة آل عمران: ١٦٤

មានន័យថា ៖ *«ប្រាកដណាស់ អល់ឡោះជាម្ចាស់បានប្រទានដល់ពួកអ្នកមានជំនឿ ខណៈដែលទ្រង់បានបញ្ជូនអ្នកនាំសារម្នាក់ក្នុងចំណោមពួកគេ។ អ្នកនាំសារនោះ អានព្រះបន្ទូលរបស់ទ្រង់ឱ្យពួកគេស្តាប់ ជម្រះសម្អាតពួកគេពីជំនឿពហុទេពនិយម បង្រៀនពួកគេពីគម្ពីរអាល់គួរអាន និងធម្មបដិបត្តិនិយមរបស់ណាពី ថ្វីបើពួកគេពីមុនឋិតក្នុងភាពវង្វេងយ៉ាងពិតប្រាកដ»។*

ទ្រង់បានមានព្រះបន្ទូលណែនាំ ដាស់រំឭកមនុស្សលោក អំពីពរជ័យដ៏ធំធេងរបស់ទ្រង់ចំពោះពួកគេ។ ទ្រង់អំពាវនាវពួកគេឱ្យដឹងគុណចំពោះទ្រង់ ដែលទ្រង់បានចង្អុលបង្ហាញឱ្យពួកគេក្លាយជាម្ចាស់ក្បួនច្បាប់នេះ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ ٱلْيَوْمَ أَكْمَلْتُ لَكُمْ دِينَكُمْ ﴾ سورة المائدة: ٣

មានន័យថា : *«ថ្ងៃនេះ យើងបានបំពេញលក្ខណៈសម្រាប់ពួកអ្នកនូវសាសនារបស់ពួកអ្នក»។*

## ១. ជាសាសនារបស់អល់ឡោះ

ពិតណាស់ ឥស្លាមជាសាសនាដែលអល់ឡោះជាម្ចាស់ទទួលស្គាល់។ ទ្រង់បានបញ្ជូនពួកអ្នកនាំសារមកជាមួយនឹងសាសនានេះ។ ទ្រង់អនុញ្ញាតឱ្យមនុស្សលោកគោរពសក្ការៈចំពោះទ្រង់តាមរយៈសាសនានេះ។ ព្រះជាម្ចាស់ជាអ្នកបង្កើត មិនដូចសត្វលោកដែលទ្រង់បានបង្កើតនោះទេ ហើយសាសនាឥស្លាមក៏មិនដូចច្បាប់ និងសាសនាដែលមនុស្សបង្កើតនោះដែរ។ ម៉្យាងទៀត ទ្រង់ជាព្រះដែលមានព្រះលក្ខណសម្បត្តិសុក្រឹតពេញលេញ។ ក៏ដូចគ្នាដែរ សាសនារបស់ទ្រង់ គឺសុក្រឹតពេញលេញ ជាក្បួនច្បាប់ដ៏មានសច្ចភាព មានប្រសិទ្ធភាពសម្រាប់ការរស់នៅរបស់មនុស្ស និងការរស់ឡើងវិញនៅថ្ងៃបរលោក។ សាសនានេះមានចែងអំពីសិទ្ធិរបស់ព្រះជាម្ចាស់ និងកាតព្វកិច្ចរបស់មនុស្សចំពោះទ្រង់ ហើយក៏មានចែងផងដែរអំពីសិទ្ធិ និងកាតព្វកិច្ចរបស់មនុស្សចំពោះមនុស្សដូចគ្នា។

## ២. ជាសាសនាដែលមានវិសាលភាពធំទូលាយ

គុណសម្បត្តិដ៏លេចធ្លោនៃសាសនានេះ គឺមានវិសាលភាពគ្របដណ្ដប់លើអ្វីគ្រប់យ៉ាង។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ مَّا فَرَّطْنَا فِي ٱلْكِتَٰبِ مِن شَيْءٍ ﴾ سورة الأنعام: ٣٨

មានន័យថា : *«យើងមិនមានទុកចោលអ្វីមួយក្នុងបញ្ជីព្រះលិខិត លើកលែងតែយើងកត់ត្រាទុកទាំងអស់»។*

វិសាលភាពនៃសាសនានេះ គ្របដណ្តប់លើអ្វីដែលទាក់ទងនឹងព្រះជាម្ចាស់ដូចជាព្រះនាម ព្រះលក្ខណសម្បត្តិ ព្រះឫទ្ធានុភាព និងអ្វីដែលទាក់ទងនឹងមនុស្សលោកដូចជាក្បួនច្បាប់ កាតព្វកិច្ច សីលធម៌ ទំនាក់ទំនង។ សាសនានេះក៏មានថែងអំពីព័តិមានពួកមនុស្សជំនាន់ដើម និងពួកមនុស្សជំនាន់ក្រោយ និយាយអំពីពួកទេវតា ពួកណាពី និងពួកអ្នកនាំសារ។ និយាយអំពីមេឃ ផែនដី ចក្រវាល ភពផ្កាយ សមុទ្រ រុក្ខជាតិ។ ម៉្យាងទៀត មានថែងអំពីមូលហេតុ គោលបំណងនៃការបង្កើតសត្វលោក និងទីអវសានរបស់សត្វលោក។ ក្នុងសាសនានេះក៏មាននិយាយអំពីឋានសួគ៌ និងលទ្ធផលរបស់ពួកអ្នកមានជំនឿ និយាយអំពីឋាននរក និងទីអវសានរបស់ពួកអ្នកគ្មានជំនឿ។

### ៣. សាសនាឥស្លាមផ្សារភ្ជាប់ព្រះជាម្ចាស់ជាមួយនឹងសត្វលោក

លក្ខណៈពិសេសនៃសាសនាដែលមិនត្រឹមត្រូវ និងរាល់សាសនានីមួយៗតោងផ្សារភ្ជាប់មនុស្សជាមួយនឹងមនុស្សដូចគ្នាដែលប្រឈមនឹងសេចក្តីស្លាប់ ភាពទន់ខ្សោយ អសមត្ថភាព និងការមានជំងឺឈឺថ្កាត់។ មិនតែប៉ុណ្ណោះ ចងភ្ជាប់មនុស្សទៅនឹងមនុស្សដែលបានស្លាប់រាប់រយឆ្នាំ ហើយសាកសពរបស់គេបានក្លាយជាធូលី។ ឯចំណែកសាសនាឥស្លាមវិញ មានលក្ខណៈពិសេសត្រង់ថា សាសនានេះផ្សារភ្ជាប់មនុស្សទៅនឹងព្រះជាម្ចាស់ដោយផ្ទាល់ គ្មានបព្វជិត គ្មានព្រះសង្ឃ គ្មានអាថ៌កំបាំងអច្ឆរិយៈ។ ជាទំនាក់ទំនងដោយផ្ទាល់រវាងព្រះជាម្ចាស់ និងមនុស្សលោកតែម្តង។ ទំនាក់ទំនងដែលភ្ជាប់ប្រាជ្ញាទៅនឹងព្រះជាម្ចាស់ធ្វើឱ្យប្រាជ្ញារបស់មនុស្សមានពន្លឺត្រចះត្រចង់ មានមគ្គទេសក៍ រីក

ចម្រើនខ្ពង់ខ្ពស់ និងមានលក្ខណៈសុក្រឹតពេញលេញ។ ប្រាជ្ញារបស់គេល្ងូតលាស់ និងរីកចម្រើនខ្ពស់ត្រដែត ចាកផុតពីភាពអាប់ឱន ពីព្រោះរាល់ចិត្តគំនិតដែលមិនផ្សារភ្ជាប់នឹងព្រះជាម្ចាស់គឺវង្វេង និងអាប់ឱនជាងសត្វពាហនៈ។

សាសនាឥស្លាមជាទំនាក់ទំនងរវាងព្រះជាម្ចាស់ និងមនុស្សលោក ដែលតាមរយៈទំនាក់ទំនងនេះធ្វើឱ្យគេស្គាល់អំពីបំណងប្រាថ្នារបស់អល់ឡោះដែលចង់បានពីមនុស្សលោក។ ដូច្នេះ គេគោរពសក្ការៈចំពោះទ្រង់ ដោយមានចក្ខុវិស័យច្បាស់លាស់។ ពួកគេស្គាល់អំពីប្រការទាំងឡាយដែលទ្រង់សព្វព្រះទ័យ ដើម្បីខិតខំប្រតិបត្តិតាម ហើយស្គាល់អំពីប្រការដែលទ្រង់មិនសព្វព្រះទ័យ ដើម្បីខិតខំព្យាយាមជៀសវាងពីប្រការទាំងនោះ។

សាសនាឥស្លាមជាទំនាក់ទំនងរវាងព្រះជាម្ចាស់ដ៏ឧត្តុង្គឧត្តម និងសត្វលោកដែលមានភាពទន់ខ្សោយ ខ្វះខាត។ ដូច្នេះ ពួកគេបួងសួងសុំជំនួយ ការសង្គ្រោះ និងការប្រទានអំពីទ្រង់។ ការបួងសួងសុំឱ្យទ្រង់ការពារពួកគេអំពីល្បិចកលរបស់ពួកអ្នកខិលខូច និងការល្បួងរបស់ពួកបិសាច។

## ៤. រក្សាការពារផលប្រយោជន៍លោកិយ៍ និងបរលោក

ក្បួនច្បាប់ឥស្លាមស្ថាបនាឡើងលើមូលដ្ឋាននៃការរក្សាការពារផលប្រយោជន៍លោកិយ៍ និងបរលោក ហើយបំពេញបន្ថែមនូវក្រមសីលធម៌ល្អ។

ទាក់ទងនឹងផលប្រយោជន៍បរលោក ច្បាប់ក្នុងសាសនានេះបាន បកស្រាយយ៉ាងពិស្តារ គ្មានទុកចោលចំណុចណាមួយនោះឡើយ។ សាសនាបានពន្យល់បកស្រាយយ៉ាងច្បាស់ ដើម្បីកុំឱ្យមនុស្សខកខាន មិនបានយល់ដឹងអំពីចំណុចទាំងនោះ។ ច្បាប់ឥស្លាមបានសន្យាពីបរម សុខនៅថ្ងៃបរលោក ហើយបានដាស់តឿនឱ្យប្រុងប្រយ័ត្នពីទារុណកម្ម នៅថ្ងៃបរលោកផងដែរ។

ចំពោះផលប្រយោជន៍ក្នុងលោកីយ៍វិញ ក្នុងសាសនានេះអល់ឡោះជាម្ចាស់បានកំណត់ច្បាប់ថែងអំពីមាត្រាដែលរក្សាការពារអាយុជីវិត ជំនឿសាសនា ទ្រព្យសម្បត្តិ ពូជអំបូរ កិត្តិយស និងបញ្ញារបស់មនុស្ស។

ទាក់ទងនឹងការបកស្រាយអំពីក្រមសីលធមិល្អគឺច្បាប់ឥស្លាមបាន បង្គាប់ឱ្យប្រកាន់ក្រមសីលធមិល្អនេះទាំងកាយ វាចា ចិត្ត។ ហាមឃាត់ ពីអំពើអសីលធមិ និងអំពើអាប់ឱន។ ក្រមសីលធមិល្អមានដូចជា ការអនាម័យ ការជម្រះសម្អាតពីភាពកខ្វក់ និងភាពគគ្រិចស្មោកគ្រោក។ ម៉្យាងទៀត ឥស្លាមបង្គាប់ឱ្យប្រើគ្រឿងក្រអូប រៀបចំតុបតែងខ្លួនឱ្យបានស្អាត ហាមឃាត់ពីអំពើអាក្រក់ ការផិតក្បត់ ការផឹកស្រា ការហូបសាច់សត្វដែលពុំបានសំឡេះត្រឹមត្រូវ ការហូបឈាម ការហូបសាច់ជ្រូក ហើយបង្គាប់ឱ្យទទួលទានចំណីអាហារ និងសាច់ដែលស្អាតស្អំ។ លើសពីនេះសាសនាបានហាមឃាត់ចំពោះការចាយវាយ និងប្រើប្រាស់ទ្រព្យសម្បត្តិដោយខ្ជះខ្ជាយ។



អនាម័យខាងក្នុងគឺជម្រះសម្អាតផ្លូវចិត្តពីអាកប្បកិរិយាអាក្រក់ ហើយប្រកាន់យកនូវសីលធម៌ល្អប្រសើរថ្លៃថ្លា។ អាកប្បកិរិយាអាក្រក់ មានដូចជា ការកុហកបោកប្រាស់ អំពើបាប ហិង្សា ការឈ្នានីស ការរិះកំណាញ់ ការប្រមាថអាយុជីវិត ការស្រលាញ់ឋានន្តរស័ក្តិ លោភលន់ទ្រព្យសម្បត្តិលោកីយ៍ ក្រអឺតក្រទម អំនួត ចង់បានមុខមាត់។ ក្រុមសីលធម៌ល្អមានដូចជា អាកប្បកិរិយាស្លូតបូត កល្យាណមិត្ត អំពើល្អ ប្រកាន់សច្ចយុត្តិធម៌ ឱនលំទោន ស្មោះត្រង់ ចិត្តសប្បុរស លះបង់ ពឹងផ្អែកចំពោះអល់ឡោះ មានចិត្តសទ្ធាជ្រះថ្លា កោតខ្លាចចំពោះអល់ឡោះ អត់ធ្មត់ និងការដឹងគុណ។

## ៥. ភាពងាយស្រួល

លក្ខណៈពិសេសរបស់សាសនាឥស្លាមផងដែរគឺរាល់ការគោរពប្រតិបត្តិទាំងឡាយមានភាពងាយស្រួល ហើយរាល់ការគោរពសក្ការៈទាំងឡាយក៏ងាយស្រួលផងដែរ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿وَمَا جَعَلَ عَلَيۡكُمۡ فِي ٱلدِّينِ مِنۡ حَرَجٖ﴾ سورة الحج: ٧٨

មានន័យថា : «*ទ្រង់មិនធ្វើឱ្យពួកអ្នកពិបាកក្នុងសាសនានេះទេ*»។

ភាពងាយស្រួលដំបូងបង្អស់ គឺអ្នកដែលចង់ចូលក្នុងសាសនានេះពុំចាំបាច់តាមរយៈមនុស្សណាម្នាក់ឬទទួលស្គាល់ពីអតីតភាពនោះទេគឺគ្រាន់តែលាងជម្រះសម្អាតខ្លួន រួចធ្វើសច្ចាថា : « គ្មានព្រះជាម្ចាស់ក្រៅពីអល់ឡោះ ហើយមូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ»។ ត្រូវ

មានជំនឿចំពោះអត្ថន័យនៃពាក្យសច្ចានេះ ហើយអនុវត្តតាមកាតព្វកិច្ចចាំបាច់ ដែលពាក្យសច្ចានេះទាមទារចង់បាន។

រាល់ការប្រតិបត្តិទាំងឡាយនឹងកាន់តែងាយស្រួល នៅពេលធ្វើដំណើរ ឬឈឺថ្កាត់។ ចំពោះផលបុណ្យវិញ គេគិតជូនដូចការប្រតិបត្តិពេលនៅផ្ទះ និងពេលមានសុខភាពល្អផងដែរ។ ក្នុងសាសនានេះធ្វើឱ្យជីវិតអ្នកមូស្លីមមានសេចក្ដីស្ងប់ និងងាយស្រួល។ ផ្ទុយពីជីវិតរស់នៅរបស់ពួកអ្នកគ្មានជំនឿដែលពោរពេញដោយសេចក្ដីលំបាកស្មុគស្មាញ។ ម៉្យាងវិញទៀត ការស្លាប់របស់អ្នកមូស្លីមក៏ងាយស្រួល ព្រោះព្រលឹងរបស់គេចេញពីខ្លួនប្រាណដូចជាតំណក់ទឹកដែលហូរចេញពីដប។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ ٱلَّذِينَ تَتَوَفَّىٰهُمُ ٱلۡمَلَٰٓئِكَةُ طَيِّبِينَ يَقُولُونَ سَلَٰمٌ عَلَيۡكُمُ ٱدۡخُلُواْ ٱلۡجَنَّةَ بِمَا كُنتُمۡ تَعۡمَلُونَ ٣٢ ﴾ سورة النحل: ٣٢

មានន័យថា :«*ពួកអ្នកស្អាតស្អំចាកផុតពីភាពគ្មានជំនឿ ដែលទេវតាដកហូតយកព្រលឹងរបស់ពួកគេគឺទេវតាបាននិយាយទៅកាន់ពួកគេថា សូមសិរីសួស្ដីកើតមានចំពោះពួកអ្នក។ ស្វាគមន៍ពិសេសសម្រាប់ពួកអ្នក។ ចូរចូលឋានសួគ៌តាមអំពើល្អដែលពួកអ្នកបានប្រតិបត្តិ*»។

រីឯពួកអ្នកគ្មានជំនឿវិញគឺនៅពេលគេជិតស្លាប់មានទេវតាដ៏កាចសាហាវមកវាយរូបគេនឹងរំពាត់បង្ខំដកយកព្រលឹងរបស់គេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَوۡ تَرَىٰٓ إِذِ ٱلظَّٰلِمُونَ فِي غَمَرَٰتِ ٱلۡمَوۡتِ وَٱلۡمَلَٰٓئِكَةُ بَاسِطُوٓاْ أَيۡدِيهِمۡ أَخۡرِجُوٓاْ أَنفُسَكُمُۖ ٱلۡيَوۡمَ تُجۡزَوۡنَ عَذَابَ ٱلۡهُونِ بِمَا كُنتُمۡ تَقُولُونَ عَلَى ٱللَّهِ غَيۡرَ ٱلۡحَقِّ وَكُنتُمۡ عَنۡ ءَايَٰتِهِۦ تَسۡتَكۡبِرُونَ ٩٣ ﴾ سورة الأنعام: ٩٣

មានន័យថា : «*នែមូហាំម៉ាត់! បើសិនជាអ្នកឃើញពួកអ្នកប្រព្រឹត្តអំពើអយុត្តិធម៌ក្នុងពេលត្រដរខ្យល់ចង់ស្លាប់ ទេវតាយកដៃដកយកព្រលឹងរបស់ពួកគេដោយនិយាយថា ចូរខ្វាក់ព្រលឹងរបស់ពួកឯងចេញមក។ ថ្ងៃនេះពួកអ្នកត្រូវរងភាពអាម៉ាស់ ដោយការដាក់ទារុណកម្មយ៉ាងខ្លាំងក្លាជាទីបំផុតតាមអ្វីដែលពួកឯងបាននិយាយប្រឌិតខុសពីការពិតចំពោះអល់ឡោះ ហើយពួកឯងក្រអឺតក្រទមមិនស្ដាប់បង្គាប់តាមព្រះបន្ទូលរបស់ទ្រង់*»។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَلَوۡ تَرَىٰٓ إِذۡ يَتَوَفَّى ٱلَّذِينَ كَفَرُواْ ٱلۡمَلَٰٓئِكَةُ يَضۡرِبُونَ وُجُوهَهُمۡ وَأَدۡبَٰرَهُمۡ وَذُوقُواْ عَذَابَ ٱلۡحَرِيقِ ٥٠ ﴾ سورة الأنفال: ٥٠

មានន័យថា : «*មូហាំម៉ាត់! បើសិនជាឯងបានឃើញ ខណៈដែលពួកអ្នកគ្មានជំនឿស្លាប់គឺពួកទេវតាទះកំផ្លៀង និងវាយគូទរបស់ពួកគេ ហើយពួកទេវតានិយាយថា ចូរភ្លក់រសជាតិទារុណកម្មដ៏ឈឺចាប់ខ្លោចផ្សានេះចុះ*»។

## ៦.ភាពយុត្តិធម៌

អ្នកដែលបានបញ្ញត្តិច្បាប់ឥស្លាម គឺអល់ឡោះជាម្ចាស់។ ទ្រង់ជាអ្នកបង្កើតសត្វលោកទាំងអស់ គ្រប់ពណ៌សម្បុរ គ្រប់ភេទ។ សត្វលោកទាំងអស់មានសិទ្ធិស្មើៗគ្នានៅចំពោះមុខច្បាប់ ភាពយុត្តិធម៌ និងក្ដីមេត្តារបស់ទ្រង់។ ទ្រង់បានបញ្ញត្តិច្បាប់សម្រាប់បុរស និងស្ត្រីឱ្យសក្តិ

សមនឹងភេទរបស់ពួកគេ។ ច្បាប់ឥស្លាមមិនលម្អៀងខាងបុរស ដោយដាន់លើគំនរទុក្ខរបស់ស្ត្រី ឬផ្តល់តម្លៃឱ្យស្ត្រី ហើយរំលោភបំពានលើបុរសនោះទេ។ ឥស្លាមមិនផ្តល់តម្លៃពិសេសដល់ជនជាតិស្បែកសហើយក៏មិនឱ្យតម្លៃចំពោះតែជនជាតិស្បែកខ្មៅនោះដែរ។ មនុស្សទាំងអស់នៅចំពោះមុខច្បាប់របស់អល់ឡោះមានសិទ្ធិស្មើៗគ្នា គ្មានអ្វីបែងចែករវាងពួកគេ។ សម្រាប់ពួកគេ គឺមានតែការកោតខ្លាចចំពោះទ្រង់តែមួយគត់។

## ៧. បង្គាប់ប្រើគ្នាឱ្យធ្វើល្អ និងហាមឃាត់គ្នាពីអំពើអាក្រក់

ច្បាប់ឥស្លាមធានានូវតម្លៃកិត្តិយស និងសេចក្តីថ្លៃថ្នូរ គឺការបង្គាប់ប្រើគ្នាឱ្យធ្វើល្អ និងហាមឃាត់គ្នាពីអំពើអាក្រក់។ ជាកាតព្វកិច្ចចំពោះអ្នកមូស្លីមប្រុសស្រីពេញវ័យមានបញ្ញា មានសមត្ថភាព គឺចាំបាច់ត្រូវតែបង្គាប់ប្រើគ្នា និងហាមឃាត់គ្នា តាមលទ្ធភាពដែលអាចធ្វើបាន អាស្រ័យតាមទំហំនៃការបង្គាប់ប្រើ និងការហាមឃាត់។ ចាំបាច់ត្រូវបង្គាប់ ឬហាមឃាត់ ដោយដៃរបស់គេ បើពុំមានលទ្ធភាព ត្រូវហាមឃាត់ដោយពាក្យសម្តីរបស់គេ។ បើពុំមានលទ្ធភាពទៀតត្រូវហាមឃាត់ដោយចិត្តរបស់គេ។ តាមរយៈការទូន្មានប្រៀនប្រដៅគ្នានេះនាំឱ្យប្រជាជាតិឥស្លាមចេះរក្សាការពារគ្នា។ បុគ្គលម្នាក់ៗចាំបាច់ត្រូវទូន្មានប្រៀនប្រដៅអ្នកដែលបានធ្វេសប្រហែសក្នុងការធ្វើអំពើល្អ ឬប្រព្រឹត្តអំពើអាក្រក់ ឱ្យពួកគេធ្វើល្អ និងជៀសវាងពីអំពើអាក្រក់។ ទោះជាបុគ្គលដែលបានប្រព្រឹត្តនោះជាអ្នកដឹកនាំគេ ឬប្រជារាស្ត្រសាមញ្ញក៏

ដោយ។ ការទូន្មានប្រៀនប្រដៅនេះស្របទៅតាមច្បាប់ និងក្រមសីលធម៌ឥស្លាមដែលច្បាប់បានចែង។

ដូចអ្នកបានឃើញស្រាប់ ការងារនេះជាកាតព្វកិច្ចបុគ្គលធ្វើតាមលទ្ធភាព ខណៈដែលរបបនយោបាយបច្ចុប្បន្នភាគច្រើនមានមោទនភាពដែលខ្លួនបានផ្តល់ឱកាសឱ្យគណបក្សប្រឆាំង ដើម្បីឃ្លាំមើលដំណើរការដឹកនាំរដ្ឋាភិបាល និងការបំពេញការងាររបស់រាជការ។

នេះគឺជាគុណសម្បត្តិមួយចំនួន បើសិនជាខ្ញុំចង់បកស្រាយឱ្យពិស្តារ គឺត្រូវពុះជ្រៀកអត្តសញ្ញាណ និងកាតព្វកិច្ចសាសនានីមួយៗជាជម្រៀកតូចៗ ហើយបកស្រាយពីហេតុផលឱ្យបានច្បាស់លាស់។ នេះជាការបញ្ញត្តិច្បាប់ប្រកបដោយគតិបណ្ឌិត ភាពល្អឯក និងសុក្រឹតភាពពេញលេញគ្មានអ្វីប្រៀបផ្ទឹម។ ចំពោះអ្នកដែលបានត្រិះរិះពិចារណាអំពីក្បួនច្បាប់ឥស្លាម ច្បាស់ជាដឹងថា ច្បាប់នេះមកអំពីអល់ឡោះជាម្ចាស់។ ច្បាប់នេះ គឺជាសច្ចភាពដែលគ្មានអ្វីគួរឱ្យសង្ស័យ ហើយជាការចង្អុលបង្ហាញដែលគ្មានក្តីវង្វេង។

បើសិនជាអ្នកចង់ប្រណិប័តន៍ចំពោះអល់ឡោះ អនុវត្តតាមក្បួនច្បាប់របស់ទ្រង់ យកគំរូតាមពួកណាពី និងពួកអ្នកនាំសាររបស់ទ្រង់គឺទ្វារសារភាពកំហុស និងការកែប្រែខ្លួននៅបើកចំហ ហើយព្រះជាម្ចាស់របស់អ្នកទ្រង់មហាអធ្យាស្រ័យ មហាមេត្តា។ ទ្រង់អំពាវនាវហៅអ្នកដើម្បីទទួលបាននូវការខន្តីអភ័យទោសអំពីទ្រង់។

# ការសារភាពកំហុស

អ្នកនាំសារមូហាំម៉ាត់បានមានប្រសាសន៍ថា :

عن أنس رضي الله عنه قال أن النبي صلى الله عليه وسلم قال : ( كل ابن آدم خطاء وخير الخطائين التوابون ) سنن الترمذي

មានន័យថា : *«រាល់កូនចៅអាដាំទាំងអស់មានកំហុស ហើយអ្នកដែលប្រសើរជាងគេក្នុងចំណោមអ្នកមានកំហុស គឺអ្នកដែលចេះសារភាពកំហុស និងកែប្រែខ្លួន»។*

មនុស្សលោកនេះ គឺជាសភាវៈដែលទន់ខ្សោយទាំងរូបរាងកាយ ទាំងចិត្តគំនិត និងបញ្ញាស្មារតី។ គេមិនអាចទទួលរ៉ាប់រងផលនៃអំពើបាប និងកំហុសរបស់ខ្លួនបានឡើយ។ អល់ឡោះជាម្ចាស់បានសម្រាលចំពោះមនុស្សលោក ដោយការខន្តីអភ័យទោសរបស់ទ្រង់។ ដូច្នេះទ្រង់បានដាក់ច្បាប់ឱ្យមានការសារភាពកំហុស និងការកែប្រែខ្លួន។ ធាតុពិតនៃការសារភាពកំហុសគឺ បោះបង់អំពើបាប។ ពីព្រោះជាអំពើអាក្រក់ក្នុងបំណងកោតខ្លាចចំពោះអល់ឡោះ ហើយសង្ឃឹមថានឹងទទួលបានការតបស្នងដែលទ្រង់បានរៀបចំត្រៀមសម្រាប់បម្រើរបស់ទ្រង់។ ម៉្យាងវិញទៀត ត្រូវមានការសោកស្ដាយ ចំពោះអ្វីដែលខ្លួនបានជ្រុលខ្លួនទៅប្រព្រឹត្ត ហើយប្ដេជ្ញាចិត្តបោះបង់ដាច់ខាតមិនត្រលប់ទៅប្រព្រឹត្តជាថ្មីម្ដងទៀត។ ត្រូវភ្ជាប់ជាមួយនឹងការសារភាពនេះ ដោយការខិតខំប្រឹងប្រែងកសាងអំពើល្អ។ ដូចជាអ្នកបានឃើញស្រាប់ហើយ ការសារភាពកំហុសគឺជាការប្រតិបត្តិផ្លូវចិត្តធ្វើឡើងរវាងខ្លួនអ្នកជាមួយនឹងព្រះជាម្ចាស់របស់អ្នក។ វាគ្មានអ្វីពិបាក ហើយគ្មានអ្វីគួរឱ្យហត់

នឿយនោះដែរ។ វាពុំមែនជាការប្រតិបត្តិដ៏ពិបាកស្មុគស្មាញនោះទេ។ តែវាជាការប្រតិបត្តិផ្លូវចិត្ត បញ្ចៀសខ្លួនពីអ្វីដែលនាំទៅប្រព្រឹត្តអំពើបាប ហើយបញ្ចៀសខ្លួនដោយការបោះបង់ និងការតាំងអារម្មណ៍ឱ្យស្ងប់ស្ងប់ស្ងាត់។

អ្នកពុំចាំបាច់ទៅសារភាពកំហុសជាមួយនរណាម្នាក់ខ្លាចក្រែងអ្នកនោះបកអាក្រាតរឿងអាស្រូវរបស់អ្នក លាតត្រដាងរឿងអាថ៌កំបាំងរបស់អ្នក ហើយឆ្លៀតឱកាសពេលអ្នកមានចំណុចខ្សោយ។ ការសារភាពកំហុស គ្រាន់តែជាការបួងសួងអង្វរកររវាងអ្នកនិងព្រះជាម្ចាស់របស់អ្នក។ វាជាការបួងសួងសុំឱ្យទ្រង់អភ័យទោស និងសុំឱ្យទ្រង់ចង្អុលបង្ហាញផ្លូវដល់អ្នក។ ធ្វើដូច្នេះ គឺទ្រង់ច្បាស់ជានឹងព្រមទទួលការសារភាពកំហុសរបស់អ្នកជាមិនខាន។

ក្នុងឥស្លាមពុំមានអំពើបាបណាដែលជាប់ជាកេរនោះទេ ហើយក៏គ្មានការសង្គ្រោះណាដែលត្រូវរង់ចាំមនុស្សណាម្នាក់នោះដែរ។ ប៉ុន្តែដូចដែលជនជាតិជ្វីហ្វសញ្ជាតិអូទ្រិសម្នាក់ឈ្មោះ **មូហាំម៉ាត់ អាសាត** ដែលបានទទួលការចង្អុលបង្ហាញពីព្រះជាម្ចាស់ឱ្យគាត់បានចូលឥស្លាម។ គាត់អះអាងថា : «ខ្ញុំមិនអាចរកឃើញចំណុចណាមួយក្នុងគម្ពីរអាល់គួរអានដែលនិយាយពីតម្រូវការនៃការសង្គ្រោះនោះទេ។ ក្នុងឥស្លាមពុំមានអំពើបាបលើកដំបូងណា ដែលជាកេរមតិកខណ្ឌចែកបុគ្គលម្នាក់ពីវាសនារបស់គេនោះទេ។ ពីព្រោះទ្រង់បានមានព្រះបន្ទូលថា :« គ្មានអ្វីសម្រាប់មនុស្សលោក លើកលែងតែអ្វីដែលខ្លួនគេបានសាង»។ គេមិនទាមទារឱ្យធ្វើការពលី ឬសម្លាប់ជីវិតខ្លួនឯង ដើម្បីបើកទ្វារសារភាព

កំហុស និងការសង្គ្រោះខ្លួនពីអំពើបាបនោះទេ។ ម៉្យាងទៀត ដូចក្នុងព្រះបន្ទូលរបស់ទ្រង់ថា ៖ «គ្មានជីវិតណាមួយទទួលបាបជំនួសជីវិតណាមួយឡើយ»។

## ឥទ្ធិពលនិងអត្ថប្រយោជន៍ដ៏ឧត្តុង្គឧត្តមនៃការសារភាពកំហុស

**ឥទ្ធិពលនិងអត្ថប្រយោជន៍នៃការសារភាពកំហុសគឺ ៖**

១.មនុស្សស្គាល់ពីវិសាលភាពនៃការខន្តី ក្តីមេត្តាករុណារបស់អល់ឡោះក្នុងការរក្សាកិត្តិយសរបស់មនុស្ស។ បើទ្រង់សព្វព្រះទ័យចង់ធ្វើបាបគេ គឺទ្រង់នឹងប្រញាប់ដាក់ទោសដោយសារអំពើបាបរបស់គេ ហើយបកអាក្រាតរឿងអាស្រូវរបស់គេក្នុងចំណោមមនុស្សទូទៅ។ ដូច្នេះ ជីវិតរស់នៅរបស់គេលែងមានន័យខ្លឹមសារ។ ក៏ប៉ុន្តែ អល់ឡោះជាម្ចាស់បានលើកតម្កើងគេ ដោយការបិទបាំងរឿងអាស្រូវរបស់គេ ហើយបិទបាំងរូបគេដោយការខន្តីរបស់ទ្រង់។ ម៉្យាងទៀត ទ្រង់ប្រទានជូនគេនូវកម្លាំងពលំ លាភសក្ការៈ និងស្បៀងអាហារផ្សេងៗ។

២. ដើម្បីឱ្យស្គាល់ពីធាតុពិតរបស់ខ្លួនឯង ខ្លួនឯងជាអ្នកជំរុញឱ្យខ្លួនឯងទៅប្រព្រឹត្តអំពើអាក្រក់។ កំហុស អំពើបាប ការធ្វេសប្រហែស ដែលកើតចេញពីខ្លួនរបស់គេ ជាភស្តុតាងបញ្ជាក់ថា ខ្លួនរបស់គេទន់ខ្សោយ អសមត្ថភាព មិនចេះអត់ធ្មត់តស៊ូជម្នះនឹងតណ្ហា និងការលោភលន់ដែលខុសច្បាប់។ ខ្លួនគេមិនអាចខ្វះអល់ឡោះជាម្ចាស់ សូម្បីមួយពព្រិចភ្នែក ដើម្បីឱ្យទ្រង់ជម្រះសម្អាត និងចង្អុលបង្ហាញរូបគេ។

៣. អល់ឡោះជាម្ចាស់បានបញ្ញត្តិច្បាប់ឱ្យសារភាពកំហុស ដើម្បីឱ្យមនុស្សទទួលបាននូវហេតុផលដ៏សំខាន់បំផុតដែលនាំឱ្យមនុស្សទទួលបានសុភមង្គល គឺការវិលត្រលប់ និងការសុំជំនួយពីទ្រង់។ តាមរយៈការសារភាពកំហុសនេះដែរ គឺនាំមកនូវការបួងសួង សុំអង្វរករ ឱនលំទោន បង្ហាញពីភាពខ្វះខាត ការស្រលាញ់ ការបារម្ភ ការកោតខ្លាច និងការសង្ឃឹមចំពោះទ្រង់។ តាមរយៈការប្រតិបត្តិនេះ ធ្វើឱ្យចិត្តរបស់មនុស្សនៅកៀកនឹងអល់ឡោះជាពិសេសបំផុត ដែលអាចកើតមានតែនៅក្នុងពេលសារភាពកំហុស និងពេលវិលត្រលប់ទៅរកអល់ឡោះតែប៉ុណ្ណោះ។

៤. អល់ឡោះនឹងអភ័យទោសរាល់កំហុសទាំងឡាយដែលកន្លងផុត។ នៅក្នុងព្រះបន្ទូលរបស់ទ្រង់ថា ៖

﴿ قُل لِّلَّذِينَ كَفَرُوٓاْ إِن يَنتَهُواْ يُغۡفَرۡ لَهُم مَّا قَدۡ سَلَفَ ﴾ سورة الأنفال: ٣٨

មានន័យថា ៖ *មូហាំម៉ាត់! ចូរអ្នកប្រាប់ពួកអ្នកគ្មានជំនឿថា បើសិនជាពួកគេព្រមបញ្ឈប់ គឺគេនឹងអភ័យទោសឱ្យពួកគេ នូវអ្វីដែលបានប្រព្រឹត្តខុសកន្លងមក។*

៥. ផ្លាស់ប្តូរពីអំពើអាក្រក់ទៅជាអំពើល្អ ដូចអល់ឡោះបានមានព្រះបន្ទូលថា ៖

﴿ إِلَّا مَن تَابَ وَءَامَنَ وَعَمِلَ عَمَلٗا صَٰلِحٗا فَأُوْلَٰٓئِكَ يُبَدِّلُ ٱللَّهُ سَيِّـَٔاتِهِمۡ حَسَنَٰتٖۗ وَكَانَ ٱللَّهُ غَفُورٗا رَّحِيمٗا ٧٠ ﴾ سورة الفرقان: ٧٠

មានន័យថា ៖ «*លើកលែងអ្នកដែលបានសារភាពកំហុស មានជំនឿ និងប្រតិបត្តិអំពើល្អ គឺឋិតនៅក្នុងចំណោមពួកអ្នកដែលអល់ឡោះជា*

*ម្ចាស់ប្តូរពីអំពើអាក្រក់របស់ពួកគេទៅជាអំពើល្អ។ អល់ឡោះជាម្ចាស់តែងតែអភ័យទោស និងអាណិតស្រលាញ់ជានិច្ច»។*

៦. មនុស្សចាំបាច់ត្រូវសម្តែងទំនាក់ទំនងជាមួយនឹងមនុស្សដែលប្រព្រឹត្តមិនគប្បីទាំងកាយ វាចា ចិត្តចំពោះគេ ដោយអនុវត្តតាមអ្វីដែលខ្លួនគេផ្ទាល់ចង់ឱ្យអល់ឡោះសម្តែងចំពោះគេ នៅពេលដែលរូបគេធ្វើខុសចំពោះទ្រង់។ ការតបស្នងនេះអាស្រ័យលើប្រភេទនៃអំពើដែលគេបានធ្វើ បើគេសម្តែងទំនាក់ទំនងល្អ គេនឹងទទួលបានផលល្អអំពីព្រះជាម្ចាស់។ ពិតណាស់ អល់ឡោះទ្រង់តបស្នងចំពោះអំពើបាបទាំងឡាយរបស់គេដោយសេចក្តីល្អ ដូចដែលទ្រង់ធ្លាប់បានខន្តីចំពោះការប្រព្រឹត្តខុសឆ្គងរបស់មនុស្សលោកទូទៅ។

៧. គេដឹងថា ខ្លួនរបស់គេមានកំហុស និងអំពើបាបច្រើន។ ដូច្នេះចាំបាច់គេត្រូវទប់ស្កាត់ខ្លួនឯងកុំបន្ទុះបង្អាប់អ្នកដទៃ។ ត្រូវឆ្លៀតពេលកែប្រែខ្លួនជាជាងការគិតអាក្រក់ទៅលើអ្នកដទៃ។

ខ្ញុំបញ្ចប់កថាខណ្ឌនេះដោយដំណើងនិទានអំពីបុរសម្នាក់មកជួបណាពីមូហាំម៉ាត់ ហើយបាននិយាយថា :

**عن أنس بن مالك قال قال رجل : يا رسول الله ما تركت من حاجة ولا داجة إلا أتيت عليها قال (أليس تشهد أن لا إله إلا الله وأن محمدا رسول الله ؟ ) ثلاث مرات قال : نعم قال : ( ذاك يأتي على ذلك ، وفي رواية فإن هذا يأتي على ذلك كله ) المعجم الصغير**

មានន័យថា : *«បពិត្រអ្នកនាំសាររបស់អល់ឡោះ! ខ្ញុំគ្មានបោះបង់អំពើបាបទាំងតូចទាំងធំទេ លើកលែងតែខ្ញុំប្រព្រឹត្តវា។ អ្នកនាំសារបានមានប្រសាសន៍ថា តើអ្នកមិនធ្វើសាក្សីថា គ្មានព្រះជាម្ចាស់ លើកលែងតែអល់ឡោះ និងមូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះឬទេ?។ គាត់សួរ*

*ចំនួនបីដង។ បុរសនោះឆ្លើយថា បាទ។ អ្នកនាំសារបានឆ្លើយថា ពាក្យនេះនឹងលុបលាងអំពើបាបទាំងអស់នោះ»។*

នៅក្នុងនិទានផ្សេងទៀតបានឱ្យដឹងថា បុរសម្នាក់បានមកជួបអ្នកនាំសាររបស់អល់ឡោះ ហើយបានសួរថា :

**عن طويل شطب الممدود رضي الله عنه أنه أتى رسول الله صلى الله عليه وسلم فقال : أرأيت رجلا عمل الذنوب كلها فلم يشرك بالله تعالى شيئا وهو في ذلك لا يترك حاجة أو داجة إلا اقتطعها بيمينه فهل لذلك من توبة قال : ( هل أسلمت قال أما أنا فأشهد أن لا إله إلا الله وحده لا شريك له وأنك رسول الله صلى الله عليه وسلم قال نعم تفعل الخيرات وتترك الشرات فيجعلهن الله عز وجل للخيرات كلهن قال وغدراتي وفجراتي قال نعم قال الله أكبر فما زال يكبر حتى توارى ) الآحاد والمثاني**

មានន័យថា : *«តើលោកយល់យ៉ាងដូចម្ដេច បើសិនជាបុរសម្នាក់ប្រព្រឹត្តអំពើបាបគ្រប់បែបយ៉ាងលើកលែងតែអំពើពហុទេព។ គឺគ្មានអំពើបាបតូចធំណាមួយត្រូវលើកលែងនោះទេ គឺគេបានប្រព្រឹត្តទាំងអស់។ តើគេអាចសារភាពកំហុសកែខ្លួនបានទេ? គាត់បានមានប្រសាសន៍ថា តើអ្នកបានចូលឥស្លាមរួចហើយមែនទេ?។ គេនិយាយថា ចំពោះខ្ញុំ! ខ្ញុំបានសច្ចាថា គ្មានព្រះជាម្ចាស់ លើកលែងតែអល់ឡោះតែមួយគត់។ ទ្រង់គ្មានដៃគូរួមចំណែក ហើយលោកគឺជាអ្នកនាំសាររបស់អល់ឡោះ។ គាត់បានមានប្រសាសន៍ថា មែន! ត្រឹមត្រូវហើយ។ អ្នកត្រូវធ្វើល្អ និងបោះបង់អំពើអាក្រក់។ អល់ឡោះជាម្ចាស់នឹងធ្វើឱ្យអំពើអាក្រក់ក្លាយជាល្អ។ គេនិយាយថា ការផិតក្បត់របស់ខ្ញុំ អំពើអបាយមុខរបស់ខ្ញុំយ៉ាងម៉េចដែរ?»។ គាត់បន្តថា ដូចគ្នា!។ គាត់បន្តថា អល់ឡោះជាម្ចាស់*

*មហាឧត្តុង្គឧត្តម »។ គាត់នៅតែពោល អ៊ីចឹងរហូតដល់គាត់ដើរចេញផុតទៅ»។*

សាសនាឥស្លាមចាត់ទុករឿងកន្លងផុតជាមោឃៈ ហើយការសារភាពដោយស្មោះត្រង់ជួយលុបលាងអំពើបាបដែលកន្លងផុត ដូចមានបញ្ជាក់ក្នុងប្រសាសន៍របស់ណាពីមូហាំម៉ាត់។

**ទោសពិន័យចំពោះអ្នកដែលមិនប្រកាន់ខ្ជាប់នឹងឥស្លាម :**

ដូចសៀវភៅនេះបានបកស្រាយប្រាប់អ្នកយ៉ាងច្បាស់ថា ឥស្លាមគឺជាសាសនារបស់អល់ឡោះ ជាសាសនាពិត ជាសាសនាដែលពួកអ្នកនាំសារ និងពួកណាពីទាំងឡាយបាននាំមក។ ជាការពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់រៀបចំផលបុណ្យដ៏ធំធេងនៅក្នុងលោកីយ៍នេះ និងនៅថ្ងៃបរលោកសម្រាប់អ្នកដែលមានជំនឿចំពោះសាសនាឥស្លាម។ ទ្រង់បានសន្យាដាក់ទារុណកម្មដ៏ខ្លាំងក្លាចំពោះអ្នកដែលប្រឆាំងជំទាស់នឹងសាសនានេះ។



ដោយហេតុថា អល់ឡោះជាអ្នកបង្កើត ជាម្ចាស់កម្មសិទ្ធិ ជាអ្នកគ្រប់គ្រង និងជាអ្នកចាត់ចែងចក្រវាល មនុស្សគ្រាន់តែជាសត្វលោកដែលទ្រង់បានបង្កើតមកតែប៉ុណ្ណោះ ទ្រង់បានបង្កើតអ្នក ហើយបានសម្រួលអ្វីៗគ្រប់យ៉ាងនៅក្នុងចក្រវាលនេះសម្រាប់ពួកអ្នក។ ទ្រង់បានដាក់ច្បាប់សម្រាប់អ្នក ហើយទ្រង់បានបង្គាប់ប្រើឱ្យអ្នកកាន់តាមច្បាប់នេះ។ បើសិនជាអ្នកមានជំនឿ និងប្រតិបត្តិតាមអ្វីដែលទ្រង់បានបង្គាប់ប្រើ និងបញ្ឈប់នូវរាល់អ្វីដែលទ្រង់បានហាមឃាត់ គឺអ្នកនឹងទទួលបានជោគជ័យទៅតាមអ្វីដែលទ្រង់បានធ្វើសន្យាចំពោះអ្នកនូវ

បរមសុខគ្រប់ប្រភេទនៅថ្ងៃបរលោកដែលគ្មានថ្ងៃសាបសូន្យ។ អ្នកនឹងក្លាយជាមនុស្សដែលមានប្រាជ្ញាឈ្លាសវៃជាងគេ មានជំនឿផ្លូវចិត្តស្អាតស្អំជាងគេ។ អ្នកនឹងក្លាយខ្លួនហាក់បីដូចជាពួកណាពី និងពួកអ្នកនាំសារ ពួកអ្នកមានគុណធមិ និងពួកទេវតាដែលនៅជិតអល់ឡោះជាម្ចាស់។

ផ្ទុយទៅវិញ បើសិនជាអ្នកប្រកែកជំទាស់ និងល្មើសចំពោះព្រះជាម្ចាស់របស់អ្នក គឺអ្នកនឹងខាតបង់ប្រយោជន៍លោកីយ៍ និងថ្ងៃបរលោក។ អ្នកច្បាស់ជាប្រឈមនឹងការដាក់ទារុណកម្មនៅលោកីយ៍នេះ និងនៅបរលោក។

ខ្ញុំនឹងបកស្រាយខ្លះៗអំពីលទ្ធផលនៃភាពគ្មានជំនឿ ដែលមានដូចតទៅ៖

## ១. ការភ័យខ្លាចនិងអសុវត្ថិភាព

អល់ឡោះជាម្ចាស់បានសន្យាចំពោះពួកអ្នកមានជំនឿ ដែលបានដើរតាមពួកអ្នកនាំសាររបស់ទ្រង់ ដោយទទួលបាននូវសុវត្ថិភាពពេញលេញក្នុងជីវិតលោកីយ៍ និងបរលោក។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ ٱلَّذِينَ ءَامَنُواْ وَلَمۡ يَلۡبِسُوٓاْ إِيمَٰنَهُم بِظُلۡمٍ أُوْلَٰٓئِكَ لَهُمُ ٱلۡأَمۡنُ وَهُم مُّهۡتَدُونَ ﴾ سورة الأنعام: ٨٢

មានន័យថា : *«ពួកអ្នកដែលមានជំនឿចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ អនុវត្តតាមច្បាប់របស់ទ្រង់ ហើយពួកគេមិនច្របល់ចូលគ្នារវាងជំនឿរបស់ពួកគេនឹងអំពើពហុទេព។ សម្រាប់ពួកគេ គឺ*

*ទទួលបានសេចក្ដីស្ងប់ និងសន្តិភាព ហើយពួកគេទទួលបាននូវការចង្អុលបង្ហាញទៅកាន់ផ្លូវដែលត្រឹមត្រូវ»។*

អល់ឡោះជាម្ចាស់ជាអ្នកបញ្ជាក់ប្រាប់អំពីសច្ចភាពរបស់ពួកអ្នកនាំសារ។ ទ្រង់ជាអ្នកឃ្លាំមើលសកម្មភាពរបស់មនុស្សលោក។ ទ្រង់ជាម្ចាស់កម្មសិទ្ធិនៃអ្វីគ្រប់យ៉ាងនៅក្នុងចក្រវាល។ បើសិនជាទ្រង់សព្វព្រះទ័យមនុស្សណាម្នាក់ ដោយសារជំនឿរបស់គេ គឺទ្រង់ប្រទានដល់រូបគេនូវសេចក្ដីសុខ សន្តិភាព និងសេចក្ដីស្ងប់។ ផ្ទុយទៅវិញ បើសិនជាបុគ្គលណាម្នាក់ប្រឆាំងជំទាស់នឹងទ្រង់ គឺទ្រង់ដកហូតយកសេចក្ដីស្ងប់ និងសន្តិភាពពីខ្លួនរបស់គេ។ អ្នកនឹងឃើញគេក្លាយជាមនុស្សភ័យខ្លាចចំពោះវាសនារបស់គេនៅថ្ងៃបរលោក ខ្លាចខ្លួនមានគ្រោះថ្នាក់ កើតជំងឺឈឺថ្កាត់ បារម្ភភ័យខ្លាចអនាគតរបស់គេនៅលោកីយ៍នេះ។ ដូច្នេះពួកគេបង្កើតទីផ្សារធានារ៉ាប់រងសម្រាប់អាយុជីវិត និងទ្រព្យសម្បត្តិ ព្រោះតែគ្មានសេចក្ដីសុខនៅក្នុងចិត្ត និងគ្មានការពឹងផ្អែកចំពោះអល់ឡោះជាម្ចាស់។



## ២. ជីវិតលំបាកវេទនា

អល់ឡោះជាម្ចាស់បង្កើតមនុស្ស។ ទ្រង់បានបង្កើតអ្វីគ្រប់យ៉ាងនៅក្នុងចក្រវាលនេះ ជាប្រយោជន៍សម្រាប់មនុស្ស។ ទ្រង់បានបែងចែកសម្រាប់សត្វលោកនីមួយៗទទួលបានចំណែកជីវភាព និងអាយុជីវិតរបស់ខ្លួន។ សូមសង្កេតមើលសត្វស្លាបហើរចោលសំបុកពីព្រឹកទៅស្វែងរកចំណី លោតពីមែកឈើមួយទៅមែកឈើមួយ ស្រែកច្រៀងកញ្ជ្រៀវ។ មនុស្សលោកជាសភាវៈដូចសត្វលោកទូទៅដែរ ទ្រង់បាន

បែងចែកជីវភាព និងអាយុជីវិតសម្រាប់ពួកគេ។ បើសិនជាមនុស្សមានជំនឿចំពោះព្រះជាម្ចាស់ ប្រតិបត្តិតាមក្បួនច្បាប់របស់ទ្រង់ គឺទ្រង់នឹងប្រទានសេចក្តីសុខសុភមង្គល ហើយសម្រួលចំពោះគ្រប់កិច្ចការងាររបស់គេ។ យ៉ាងហោចណាស់ក៏ពួកគេអាចទទួលបាននូវកត្តាចាំបាច់សំខាន់ៗមួយចំនួនសម្រាប់កសាងជីវិត។

បើសិនជាគេប្រកែកមិនព្រមមានជំនឿចំពោះព្រះជាម្ចាស់ ក្រអឺតក្រទម មិនព្រមគោរពសក្ការៈចំពោះទ្រង់ គឺទ្រង់នឹងធ្វើឱ្យជីវិតរស់នៅរបស់គេលំបាកវេទនា។ ទ្រង់ធ្វើឱ្យគេកើតទុក្ខខ្វល់ខ្វាយ បើទោះបីជារូបគេជាមនុស្សដែលមានទ្រព្យសម្បត្តិស្តុកស្តម្ភសម្រាប់បម្រើសេចក្តីសុខរបស់គេក៏ដោយ។ តើអ្នកឃើញទេ ហេតុអ្វីបានជាភាគច្រើនអ្នកដែលធ្វើអត្តឃាតគឺនៅក្នុងប្រទេសដែលពលរដ្ឋរបស់ខ្លួនទទួលបានការផ្គត់ផ្គង់គ្រប់គ្រាន់ផ្នែកសុខុមាលភាពសំរាប់ការរស់នៅ? អ្នកឃើញទេ តើហេតុអ្វីបានជាមានការខ្វះខ្វាយក្នុងការប្រើប្រាស់គ្រឿងសង្ហារឹមគ្រប់ប្រភេទ ការធ្វើដំណើរកម្សាន្តគ្រប់ទីកន្លែង ដើម្បីស្វែងរកសេចក្តីរីករាយក្នុងជីវិត? ពិតណាស់ អ្វីដែលនាំឱ្យពួកគេខ្វះខ្វាយ គឺដោយសារភាពទទេស្អាតនៅក្នុងចិត្តដែលគ្មានជំនឿ និងអារម្មណ៏ថប់ចង្អៀត លំបាកវេទនា ហើយព្យាយាមលុបបំបាត់សេចក្តីកង្វល់នេះ ដោយមធ្យោបាយផ្សេងៗផ្លាស់ប្តូរចុះឡើង។ នៅក្នុងបន្ទូលមួយរបស់អល់ឡោះ ដែលទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَنْ أَعْرَضَ عَن ذِكْرِى فَإِنَّ لَهُۥ مَعِيشَةً ضَنكًا وَنَحْشُرُهُۥ يَوْمَ ٱلْقِيَٰمَةِ أَعْمَىٰ ﴿١٢٤﴾ ﴾ سورة طه: ١٢٤

មានន័យថា : *«នរណាងាកចេញពីការក្រើនរំឭករបស់យើង ប្រាកដណាស់ ជីវិតរស់នៅរបស់គេ គឺជាជីវិតរស់នៅដ៏សែនលំបាកវេទនាបំផុត ហើយនៅថ្ងៃបរលោកយើងនឹងបង្កើតគេឱ្យរស់ឡើងវិញក្នុងស្ថានភាពខ្វាក់ភ្នែក»។*

## ៣. រស់ក្នុងភ្លើងសង្គ្រាមជាមួយខ្លួនឯងនិងពិភពនៅជុំវិញខ្លួន

ដោយសារខ្លួនរបស់គេកើតក្នុងកំណើតនៃជំនឿចំពោះព្រះតែមួយគត់ ដូចទ្រង់បានមានព្រះបន្ទូលថា :

﴿ فِطۡرَتَ ٱللَّهِ ٱلَّتِي فَطَرَ ٱلنَّاسَ عَلَيۡهَا ﴾ سورة الروم: ٣٠

មានន័យថា : *»អល់ឡោះបានបង្កើតមនុស្សមកក្នុងនិស្ស័យពីកំណើត»។*

មនុស្សគ្រប់រូប ខ្លួនរបស់គេស្តាប់បង្គាប់តាមព្រះជាម្ចាស់ ដើរតាមប្រព័ន្ធក្រឹត្យក្រមរបស់ទ្រង់។ អ្នកគ្មានជំនឿចចេសពុំព្រមដើរតាមនិស្ស័យពីកំណើតនេះទេ។ គេសុខចិត្តរស់នៅតាមជម្រើសផ្ទុយពីការបង្គាប់របស់ព្រះជាម្ចាស់។ បើទោះជាខ្លួនប្រាណរបស់គេស្តាប់បង្គាប់តាមព្រះក៏ដោយ តែជម្រើសរបស់គេ គឺផ្ទុយពីនេះ។

រូបគេឋិតនៅក្នុងស្ថានភាពធ្វើសង្គ្រាមជាមួយពិភពជុំវិញខ្លួន។ ពីព្រោះពិភពលោក គឺគិតចាប់ពីកាឡាក់ស៊ីដ៏ធំបំផុតរហូតដល់សត្វល្អិតដ៏តូចបំផុត ក៏កំពុងធ្វើដំណើរតាមក្រឹត្យក្រមដែលកំណត់ដោយព្រះជាម្ចាស់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ ثُمَّ ٱسۡتَوَىٰٓ إِلَى ٱلسَّمَآءِ وَهِيَ دُخَانٞ فَقَالَ لَهَا وَلِلۡأَرۡضِ ٱئۡتِيَا طَوۡعًا أَوۡ كَرۡهٗا قَالَتَآ أَتَيۡنَا طَآئِعِينَ ١١ ﴾
سورة فصلت: ١١

មានន័យថា : *«បន្ទាប់មក ទ្រង់យាងទៅបង្កើតមេឃ ខណៈដែលមេឃនៅជាផ្សែងនៅឡើយ។ ទ្រង់បានមានព្រះបន្ទូលទៅកាន់មេឃ និងដីថា ចូរកើតឡើង! ដោយស្តាប់បង្គាប់ ឬដោយបង្ខំ។ មេឃ និងដីបានឆ្លើយថា ពួកយើងកើតជាមេឃ និងកើតជាដី ដោយស្តាប់តាមការបង្គាប់របស់ទ្រង់»។*

ពិភពលោកទាំងមូលស្រលាញ់អ្នកដែលដើរស្របជាមួយវា ស្តាប់បង្គាប់តាមអល់ឡោះ ហើយស្អប់ខ្ពើមចំពោះអ្នកដែលដើរផ្ទុយពីវា។ មនុស្សគ្មានជំនឿ គឺជាមនុស្សដែលដកខ្លួនចេញពីគេ ដោយតាំងខ្លួនប្រឆាំងជំទាស់នឹងព្រះជាម្ចាស់។ ដូច្នេះ សក្តិសមណាស់សម្រាប់រូបគេដែលត្រូវមេឃ ផែនដី និងសត្វលោកទាំងឡាយស្អប់ខ្ពើមរូបគេ។ វាជាការស្អប់ខ្ពើមចំពោះអំពើគ្មានជំនឿ និងភាពទមិឡឥតសាសនារបស់គេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَقَالُوا اتَّخَذَ الرَّحْمَٰنُ وَلَدًا (٨٨) لَّقَدْ جِئْتُمْ شَيْئًا إِدًّا (٨٩) تَكَادُ السَّمَاوَاتُ يَتَفَطَّرْنَ مِنْهُ وَتَنشَقُّ الْأَرْضُ وَتَخِرُّ الْجِبَالُ هَدًّا (٩٠) أَن دَعَوْا لِلرَّحْمَٰنِ وَلَدًا (٩١) وَمَا يَنبَغِي لِلرَّحْمَٰنِ أَن يَتَّخِذَ وَلَدًا (٩٢) إِن كُلُّ مَن فِي السَّمَاوَاتِ وَالْأَرْضِ إِلَّا آتِي الرَّحْمَٰنِ عَبْدًا (٩٣) ﴾ سورة مريم: ٨٨ - ٩٣

មានន័យថា : *«ពួកគេនិយាយថា ព្រះជាម្ចាស់ទ្រង់មហាមេត្តា។ ទ្រង់មានកូន។ ប្រាកដណាស់ ពួកអ្នកបាននិយាយនូវពាក្យមួយដែលមានបាបកម្មធ្ងន់ធ្ងរណាស់។ មេឃទាំងប្រាំពីរជាន់ស្ទើរតែផ្ទុះបែកដោយសារពាក្យសម្តីនេះ។ ផែនដីប្រេះបែក ភ្នំទាំងឡាយនឹងរលំ ព្រោះតែខឹងសម្បានឹងពួកគេជំនួសអល់ឡោះ ដោយសារពួកគេអះអាងថា ព្រះមានកូន។ ព្រះជាម្ចាស់មហាមេត្តា ទ្រង់មិនគប្បីមានកូននោះទេ។ អ្វី*

*គ្រប់យ៉ាងនៅលើមេឃទាំងប្រាំពីរជាន់ និងនៅលើដីនឹងទៅជួបអល់ឡោះជាម្ចាស់នៅថ្ងៃបរលោកក្នុងនាមជាខ្ញុំបម្រើរបស់ទ្រង់ទាំងអស់គ្នា»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលអំពីផារ៉អុង និងកងទ័ពរបស់គេថា :

﴿ فَمَا بَكَتۡ عَلَيۡهِمُ ٱلسَّمَآءُ وَٱلۡأَرۡضُ وَمَا كَانُواْ مُنظَرِينَ ﴿٢٩﴾ ﴾ سورة الدخان: ٢٩

មានន័យថា : «*មេឃនិងដីមិនបានយំសោក កើតទុក្ខ ចំពោះផារ៉អុង និងកងទ័ពរបស់គេឡើយ ហើយពួកគេពុំត្រូវបានពន្យារការដាក់ទោសដែលនឹងកើតឡើងចំពោះពួកគេនោះដែរ*»។

## ៤. ការរស់ក្នុងភាពល្ងង់ខ្លៅ

ភាពគ្មានជំនឿ គឺជាភាពល្ងង់ខ្លៅ ហើយភាពគ្មានជំនឿធ្ងន់ធ្ងរជាងភាពល្ងង់ខ្លៅ ពីព្រោះអ្នកគ្មានជំនឿក្លាយជាអ្នកដែលល្ងង់ខ្លៅ មិនស្គាល់ព្រះជាម្ចាស់។ គេមើលពិភពលោកដែលទ្រង់បានបង្កើតនេះគួរឱ្យអស្ចារ្យ ហើយឃើញថា ជាការបង្កើតដ៏មហិមា។ តែគេបែរជាល្ងង់ខ្លៅ មិនស្គាល់អ្នកដែលបានបង្កើតពិភពលោកនេះ។ មិនដឹងថា តើនរណាជាអ្នកបង្កើតរូបគេឱ្យក្លាយជាមនុស្ស។ តើនេះមិនមែនជាភាពល្ងង់ខ្លៅទេឬ?

## ៥. ភាពអយុត្តិធម៌ចំពោះខ្លួនឯង និងអ្នកនៅជុំវិញខ្លួន

ទាំងនេះពីព្រោះតែគេប្រើប្រាស់ខ្លួនរបស់គេសម្រាប់អ្វីផ្សេងក្រៅពីគោលបំណងដែលគេបានបង្កើត។ គេមិនគោរពសក្ការៈចំពោះព្រះជាម្ចាស់។ ប៉ុន្តែគេបែរជាគោរពសក្ការៈចំពោះអ្វីផ្សេងក្រៅពីទ្រង់ទៅវិញ។ ភាពអយុត្តិធម៌មានន័យថា ដាក់របស់អ្វីមួយខុសពីកន្លែងដើមរបស់វា។ តើមានភាពអយុត្តិធម៌ណាខ្លាំងជាងការឧទ្ទិសការគោរពសក្ការៈចំពោះអ្នកដែលមិនសក្តិសមនឹងទទួល។ ពិតណាស់ លោក **លុកម៉ាន** ដែលជាកវីម្នាក់បាននិយាយបញ្ជាក់ពីសេចក្តីអាក្រក់នៃអំពីពហុទេពថា :

﴿ يَٰبُنَيَّ لَا تُشۡرِكۡ بِٱللَّهِۖ إِنَّ ٱلشِّرۡكَ لَظُلۡمٌ عَظِيمٞ ١٣ ﴾ لقمان: ١٣

មានន័យថា : *«នែកូនសម្លាញ់! ចូរឯងកុំធ្វើពហុទេពចំពោះអល់ឡោះ។ ពិតណាស់ អំពើពហុទេពជាអំពើអយុត្តិធម៌ដ៏ធំបំផុត»។*

ម្យ៉ាងទៀត គេគឺជាមនុស្សដែលប្រព្រឹត្តអយុត្តិធម៌ចំពោះមនុស្ស និងសភាវៈដែលនៅជុំវិញរូបគេ។ ពីព្រោះគេមិនស្គាល់អ្នកដែលមានសិទ្ធិទទួលនូវការគោរពសក្ការៈនេះ។ លុះដល់ថ្ងៃបរលោករាល់ជនរងគ្រោះដែលខ្លួនគេបានប្រព្រឹត្តអយុត្តិធម៌ ទាំងមនុស្ស និងសត្វនឹងប្តឹងតវ៉ាចំពោះព្រះជាម្ចាស់ ដើម្បីទាមទាររកយុត្តិធម៌របស់ពួកគេមកវិញ។

## ៦.ប្រឈមនឹងការក្រោធខឹងរបស់អល់ឡោះក្នុងលោកីយ៍នេះ

ការប្រឈមនោះនឹងកើតមានគ្រោះថ្នាក់ ការវិនាសអន្តរាយ ការដាក់ទណ្ឌកម្មពិន័យយ៉ាងទាន់ហន់បំផុត។

ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ أَفَأَمِنَ ٱلَّذِينَ مَكَرُواْ ٱلسَّيِّـَٔاتِ أَن يَخۡسِفَ ٱللَّهُ بِهِمُ ٱلۡأَرۡضَ أَوۡ يَأۡتِيَهُمُ ٱلۡعَذَابُ مِنۡ حَيۡثُ لَا يَشۡعُرُونَ ﴿٤٥﴾ أَوۡ يَأۡخُذَهُمۡ فِي تَقَلُّبِهِمۡ فَمَا هُم بِمُعۡجِزِينَ ﴿٤٦﴾ أَوۡ يَأۡخُذَهُمۡ عَلَىٰ تَخَوُّفٖ فَإِنَّ رَبَّكُمۡ لَرَءُوفٞ رَّحِيمٌ ﴿٤٧﴾ ﴾ سورة النحل: ٤٥ - ٤٧

មានន័យថា ៖ *«តើពួកអ្នកគ្មានជំនឿដែលកំពុងប្រើល្បិចកលអាក្រក់នោះ អាចរួចផុតពីការដែលអល់ឡោះធ្វើឱ្យដីស្រូបយកពួកគេ ឬទ្រង់ដាក់ទណ្ឌកម្មពិន័យដោយពួកគេមិនដឹងខ្លួន ឬទ្រង់ដាក់ទារុណកម្មចំពោះពួកគេ ក្នុងពេលដែលពួកគេចេញទៅរកស៊ី? ហើយពួកគេមិនអាចគេចផុតពីទារុណកម្មរបស់ទ្រង់ឡើយ។ ទ្រង់ដាក់ទណ្ឌកម្មចំពោះពួកគេដោយគ្រោះទុរភិក្ស ខាតបង់ទ្រព្យសម្បត្តិ និងបាត់បង់អាយុជីវិត។ ពិតណាស់ អល់ឡោះមហាអាណិតស្រលាញ់ចំពោះសត្វលោករបស់ទ្រង់»។*



អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَلَا يَزَالُ ٱلَّذِينَ كَفَرُواْ تُصِيبُهُم بِمَا صَنَعُواْ قَارِعَةٌ أَوۡ تَحُلُّ قَرِيبٗا مِّن دَارِهِمۡ حَتَّىٰ يَأۡتِيَ وَعۡدُ ٱللَّهِۚ إِنَّ ٱللَّهَ لَا يُخۡلِفُ ٱلۡمِيعَادَ ﴿٣١﴾ ﴾ سورة الرعد: ٣١

មានន័យថា ៖ *«ពួកអ្នកគ្មានជំនឿនឹងត្រូវទទួលរងគ្រោះថ្នាក់ជាដរាបដោយមូលហេតុនៃការគ្មានជំនឿរបស់ពួកគេដូចជាការស្លាប់ ត្រូវចាប់ជាចំណាប់ខ្មាំងក្នុងសង្គ្រាមដោយពួកអ្នកមូស្លីម ឬកើតគ្រោះមហន្តរាយនៅក្បែរភូមិស្រុករបស់ពួកគេ រហូតដល់ថ្ងៃសន្យារបស់អល់ឡោះ*

*ដែលទ្រង់ឱ្យពួកអ្នកមូស្លីមឈ្នះលើពួកគេ។ ពិតណាស់ អល់ឡោះនឹងមិនក្បត់ការសន្យានោះទេ»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَوَأَمِنَ أَهْلُ ٱلْقُرَىٰٓ أَن يَأْتِيَهُم بَأْسُنَا ضُحًى وَهُمْ يَلْعَبُونَ ﴿٩٨﴾ ﴾ سورة الأعراف: ٩٨

មានន័យថា : *«តើពួកអ្នកស្រុកមានសុវត្ថិភាពដែរឬទេដែលទារុណកម្មរបស់យើងកើតឡើងចំពោះពួកគេនៅពេលព្រឹក ខណៈដែលពួកគេកំពុងភ្លេចខ្លួនរវល់នឹងការងាររស់នៅរបស់ពួកគេ? »។*

នេះគឺជាបញ្ហារបស់ពួកអ្នកដែលងាកចេញពីសេចក្តីក្រេីនរំឭករបស់អល់ឡោះ។ ទ្រង់បានមានព្រះបន្ទូលប្រាប់ពីការដាក់ទារុណកម្មចំពោះមនុស្សដែលគ្មានជំនឿនៅជំនាន់មុនថា :

﴿ فَكُلًّا أَخَذْنَا بِذَنۢبِهِۦ ۖ فَمِنْهُم مَّنْ أَرْسَلْنَا عَلَيْهِ حَاصِبًا وَمِنْهُم مَّنْ أَخَذَتْهُ ٱلصَّيْحَةُ وَمِنْهُم مَّنْ خَسَفْنَا بِهِ ٱلْأَرْضَ وَمِنْهُم مَّنْ أَغْرَقْنَا ۚ وَمَا كَانَ ٱللَّهُ لِيَظْلِمَهُمْ وَلَٰكِن كَانُوٓا۟ أَنفُسَهُمْ يَظْلِمُونَ ﴿٤٠﴾ ﴾ سورة العنكبوت: ٤٠

មានន័យថា : *«ពួកអ្នកដែលបានលើកឡើងខាងលើ យើងដាក់ទោសតាមអំពើបាបរបស់ពួកគេ។ អ្នកខ្លះយើងដាក់ទារុណកម្មដោយទម្លាក់គ្រាប់ក្រួស ហើយអ្នកខ្លះទៀតត្រូវវិនាសដោយសំឡេងស្រែក។ អ្នកខ្លះត្រូវដីស្រូប ហើយខ្លះទៀតត្រូវលង់ទឹកស្លាប់។ អល់ឡោះជាម្ចាស់ទ្រង់មិនរំលោភបំពានទៅលើពួកគេទេ តែពួកគេខ្លួនឯងទេ ដែលប្រព្រឹត្តអយុត្តិធម៌ចំពោះខ្លួនឯងនោះ»។*

ទាំងអស់នេះគឺដូចអ្វីដែលពួកអ្នកបានឃើញនូវគ្រោះមហន្តរាយកើតឡើងនៅជុំវិញខ្លួនអ្នក នៃក្រុមមនុស្សដែលអល់ឡោះបានដាក់ទារុណកម្ម និងព្រមានចំពោះពួកគេ។

## ៧. វាសនាកំណត់ឱ្យខកបំណងនិងការខាតបង់

ដោយសារតែអំពើអយុត្តិធម៌ គេបានខាតបង់យ៉ាងធំបំផុតនូវភាពរីករាយនៅក្នុងចិត្ត និងដួងវិញ្ញាណរបស់គេ។ ភាពរីករាយនោះ គឺការស្គាល់អល់ឡោះ ការបួងសួងអង្វរករចំពោះទ្រង់ និងសេចក្ដីស្ងប់ចិត្តនៅពេលធ្វើសក្ការៈចំពោះទ្រង់។ គេខាតបង់លោកីយ៍ ពីព្រោះគេរស់នៅក្នុងលោកីយ៍នេះពោរពេញដោយភាពសោកសៅនិងខ្វល់ខ្វាយ។ គេខាតបង់ខ្លួនឯងដែលខ្លួនខំរកស៊ីប្រមូលទ្រព្យសម្បត្តិដើម្បីខ្លួនឯង។ ពីព្រោះគេខំចំណាយកម្លាំងកាយចិត្តខុសពីគោលបំណងដែលព្រះបានបង្កើត។ ជីវិតរបស់គេក្នុងលោកីយ៍នេះមិនមានសុភមង្គល ព្រោះគេរស់នៅក្នុងគ្រោះដ៏អាក្រក់ គេស្លាប់ក្នុងសំណាងអាក្រក់ ហើយគេនឹងរស់ឡើងវិញក្នុងចំណោមពួកអ្នកដែលមានសំណាងអាក្រក់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَنْ خَفَّتْ مَوَٰزِينُهُۥ فَأُوْلَـٰٓئِكَ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُم ﴾ سورة الأعراف: ٩

មានន័យថា : *«អ្នកដែលថ្លឹងជញ្ជីងអំពើល្អរបស់គេស្រាល គឺគេឋិតក្នុងចំណោមពួកអ្នកដែលខាតបង់ខ្លួនឯង»។*

ការខាតបង់គ្រួសារ ព្រោះគេរស់នៅជាមួយពួកគេក្នុងភាពគ្មានជំនឿ។ ដូច្នេះ ពួកគេក៏ដូចគ្នានឹងរូបគេដែរ គឺមានវាសនាអាក្រក់

លំបាកវេទនា ហើយវាសនារបស់ពួកគេ គឺត្រូវស្ថិតនៅក្នុងឋាននរក។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿إِنَّ ٱلۡخَٰسِرِينَ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ وَأَهۡلِيهِمۡ يَوۡمَ ٱلۡقِيَٰمَةِ﴾ الزمر: ١٥

មានន័យថា :«*ពិតណាស់ពួកអ្នកដែលខាតបង់ គឺពួកអ្នកដែលបានខាតបង់ខ្លួនឯង និងក្រុមគ្រួសាររបស់គេនៅថ្ងៃបរលោក*»។

នៅថ្ងៃបរលោកពួកគេត្រូវគេកេណ្ឌប្រមូលទៅកាន់ភ្លើងនរកទាំងអស់គ្នា ហើយជាទីឋានដ៏អាក្រក់បំផុត។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿۞ ٱحۡشُرُواْ ٱلَّذِينَ ظَلَمُواْ وَأَزۡوَٰجَهُمۡ وَمَا كَانُواْ يَعۡبُدُونَ ﴿٢٢﴾ مِن دُونِ ٱللَّهِ فَٱهۡدُوهُمۡ إِلَىٰ صِرَٰطِ ٱلۡجَحِيمِ ﴿٢٣﴾﴾ سورة الصافات ٢٢-٢٣

មានន័យថា : «*ពួកទេវតាទាំងឡាយ ចូរប្រមូលពួកអ្នកដែលប្រព្រឹត្តអំពើអយុត្តិធម៌ ដៃគូរបស់ពួកគេ និងព្រះបដិមាដែលពួកគេគោរពបូជាក្រៅពីអល់ឡោះ ហើយបញ្ជូនពួកគេទៅកាន់ផ្លូវនរក*»។

## ៨. រស់ក្នុងភាពគ្មានជំនឿ ប្រឆាំងនឹងពរជ័យរបស់ទ្រង់

ពិតណាស់ អល់ឡោះជាម្ចាស់ទ្រង់បានបង្កើតរូបគេពីមិនទាន់កើតជាមនុស្ស ឱ្យកើតជាមនុស្ស ហើយប្រទានពរជ័យគ្រប់បែបយ៉ាងដល់រូបគេ។ ប៉ុន្តែខ្លួនគេ បែរជាគោរពបូជាអ្នកផ្សេងក្រៅពីទ្រង់ទៅវិញ។ ពួកគេគោរពអ្នកផ្សេងជាម្ចាស់ក្រៅពីទ្រង់ ដឹងគុណចំពោះអ្នកផ្សេងក្រៅពីទ្រង់។ តើមានការជំទាស់ប្រឆាំងណាមួយដែលខ្លាំងជាងទង្វើទាំងនេះទេ? តើមានអំពើអាក្រក់ណាឃោរឃៅជាងនេះទេ?

## ៩. រារាំងខ្លួនឯងពីជីវិតពិត

ដោយសារមនុស្សដែលមានជីវិតសម្បូរស្តុកស្តម្ភគឺជាមនុស្សដែលមានជំនឿចំពោះព្រះជាម្ចាស់ ស្គាល់ពីបំណងប្រាថ្នារបស់ខ្លួន យល់ច្បាស់ពីវាសនារបស់ខ្លួន មានភាពជឿជាក់ចំពោះថ្ងៃរស់ឡើងវិញ ពួកគេស្គាល់ពីសិទ្ធិ និងកាតព្វកិច្ចដែលខ្លួនត្រូវបំពេញ មិនរំលោភបំពានលើសិទ្ធិអ្នកដទៃឡើយ។ ពួកគេមិនបៀតបៀនចំពោះសត្វលោកទូទៅ។ ការរស់នៅរបស់ពួកគេក្នុងជីវិតសុភមង្គល ហើយទទួលបានជីវិតរស់នៅដ៏ប្រសើរថ្លៃថ្លាក្នុងលោកិយ៍នេះ និងនៅថ្ងៃបរលោក។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ مَنْ عَمِلَ صَٰلِحًا مِّن ذَكَرٍ أَوْ أُنثَىٰ وَهُوَ مُؤْمِنٌ فَلَنُحْيِيَنَّهُۥ حَيَوٰةً طَيِّبَةً ﴾ سورة النحل: ٩٧

មានន័យថា : *នរណាដែលធ្វើអំពើល្អ ទោះជាបុរសឬស្ត្រី ហើយខ្លួនជាអ្នកមានជំនឿ យើងនឹងប្រទានជីវិតរស់នៅដ៏ប្រសើរថ្លៃថ្លាដល់រូបគេ។*

នៅថ្ងៃបរលោកអល់ឡោះបានមានព្រះបន្ទូលថា :

﴿ وَمَسَٰكِنَ طَيِّبَةً فِي جَنَّٰتِ عَدْنٍ ۚ ذَٰلِكَ ٱلْفَوْزُ ٱلْعَظِيمُ ﴿١٢﴾ ﴾ سورة الصف: ١٢

មានន័យថា : *«លំនៅដ្ឋានដ៏ល្អប្រពៃនៅក្នុងឋានសួគ៌អេដែននោះ គឺជាភាពជោគជ័យដ៏ឧត្តុង្គឧត្តមបំផុត»។*

ចំណែកអ្នកដែលរស់នៅក្នុងជីវិតនេះ ប្រៀបដូចជាជីវិតសត្វពាហនៈ គឺគេមិនស្គាល់ព្រះជាម្ចាស់ មិនយល់ពីគោលបំណងខ្លួនឯង មិនដឹងពីវាសនារបស់ខ្លួន។ គោលបំណងរបស់គេគឺស៊ីផឹក ដេក...។ តើមានភាពខុសគ្នាត្រង់ណារវាងរូបគេ និងសត្វទាំងឡាយ។ តែមនុស្សអាច

វង្វេង និងអាប់ឱនជាងសត្វឃាតក៏មានដែរ ដូចដែលអល់ឡោះបាន មានព្រះបន្ទូលថា :

﴿ وَلَقَدۡ ذَرَأۡنَا لِجَهَنَّمَ كَثِيرٗا مِّنَ ٱلۡجِنِّ وَٱلۡإِنسِۖ لَهُمۡ قُلُوبٞ لَّا يَفۡقَهُونَ بِهَا وَلَهُمۡ أَعۡيُنٞ لَّا يُبۡصِرُونَ بِهَا وَلَهُمۡ ءَاذَانٞ لَّا يَسۡمَعُونَ بِهَآۚ أُوْلَٰٓئِكَ كَٱلۡأَنۡعَٰمِ بَلۡ هُمۡ أَضَلُّۚ أُوْلَٰٓئِكَ هُمُ ٱلۡغَٰفِلُونَ ١٧٩ ﴾ سورة الأعراف: ١٧٩

មានន័យថា : *«ជាការពិត យើងបានបង្កើតសម្រាប់ភ្លើងនរក គឺភាគច្រើនជាបិសាចនិងមនុស្ស។ ពួកគេមានចិត្តតែមិនចេះគិត មានភ្នែកគ្មានប្រស្រី មានត្រចៀកមិនចេះស្តាប់។ ពួកគេប្រៀបដូចជាសត្វឃាត។ តែពួកគេវង្វេង និងអាប់ឱនជាងសត្វឃាត។ ពួកគេគឺជាពួកអ្នកដែលភ្លើតភ្លើននិងភ្លេចខ្លួន»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ أَمۡ تَحۡسَبُ أَنَّ أَكۡثَرَهُمۡ يَسۡمَعُونَ أَوۡ يَعۡقِلُونَۚ إِنۡ هُمۡ إِلَّا كَٱلۡأَنۡعَٰمِۖ بَلۡ هُمۡ أَضَلُّ سَبِيلًا ٤٤ ﴾ سورة الفرقان: ٤٤

មានន័យថា : *«តើអ្នកគិតថា ពួកគេភាគច្រើនចេះស្តាប់ ឬចេះគិតពិចារណាមែនទេ? ពួកគេគ្មានខុសអ្វីក្រៅពីសត្វពាហនៈនោះទេ។ តែពួកគេវង្វេង និងអាប់ឱនជាងសត្វពាហនៈទៅទៀត»។*

## ១០. ការទទួលទារុណកម្មជាអមតៈ

ដោយហេតុថា អ្នកគ្មានជំនឿនឹងត្រូវប្តូរពីទារុណកម្មមួយទៅមួយ ធ្វើឱ្យគេចាកចេញពីលោកីយ៍នេះដោយបៀមទៅជាមួយនូវទុក្ខសោក និងសេចក្តីលំបាកវេទនាទៅកាន់ឋានបរលោក ហើយដំណាក់កាលដំបូងនៃថ្ងៃបរលោកគឺទេវតាដកហូតយកជីវិតនឹងចុះមក។ ទេវ

តាទារុណកម្មនឹងមកដល់មុន ដើម្បីឱ្យគេភ្លក់រសជាតិទារុណកម្មតាមអ្វីដែលសក្តិសម។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَلَوْ تَرَىٰٓ إِذْ يَتَوَفَّى ٱلَّذِينَ كَفَرُوا۟ ۙ ٱلْمَلَـٰٓئِكَةُ يَضْرِبُونَ وُجُوهَهُمْ وَأَدْبَـٰرَهُمْ وَذُوقُوا۟ عَذَابَ ٱلْحَرِيقِ ﴿٥٠﴾ ﴾ سورة الأنفال: ٥٠

មានន័យថា : *«បើសិនជាអ្នកឃើញខណៈដែលពួកអ្នកគ្មានជំនឿស្លាប់ពួកទេវតាទះកំផ្លៀងពួកគេ និងវាយគូទរបស់ពួកគេ»។*

បន្ទាប់ពីព្រលឹងចាកចេញពីខ្លួនប្រាណ គេនឹងត្រូវបញ្ចុះទៅក្នុងផ្នូរ។ ក្នុងផ្នូរនោះ គេនឹងទទួលទារុណកម្មធ្ងន់ធ្ងរជាទីបំផុត ដូចអល់ឡោះជាម្ចាស់បានមានព្រះបន្ទូលប្រាប់ពីរាជវង្សរបស់ស្តេចផារ៉អុងថា :

﴿ ٱلنَّارُ يُعْرَضُونَ عَلَيْهَا غُدُوًّا وَعَشِيًّا ۖ وَيَوْمَ تَقُومُ ٱلسَّاعَةُ أَدْخِلُوٓا۟ ءَالَ فِرْعَوْنَ أَشَدَّ ٱلْعَذَابِ ﴿٤٦﴾ ﴾ سورة غافر: ٤٦

មានន័យថា : *«គេយកពួកគេទៅបង្ហាញនៅមុខភ្លើងនរកទាំងព្រឹកល្ងាច។ នៅថ្ងៃបរលោកគេពោលថា ចូរយកពួករាជវង្សផារ៉អុងទៅដាក់ក្នុងភ្លើងនរកដែលមានទារុណកម្មខ្លាំងក្លាបំផុត»។*

លុះដល់ថ្ងៃបរលោក គេនឹងបង្កើតសត្វលោកឱ្យរស់ឡើងវិញ។ គេនឹងបង្ហាញរាល់ទង្វើសកម្មភាពទាំងឡាយរបស់មនុស្សម្នាក់ៗ។ ពួកអ្នកគ្មានជំនឿមើលឃើញថា អល់ឡោះបានកត់ត្រាទុកក្នុងបញ្ជីនោះនូវអ្វីគ្រប់យ៉ាងដែលពួកគេបានធ្វើ ដូចអល់ឡោះបានមានព្រះបន្ទូលថា :

﴿ وَوُضِعَ ٱلۡكِتَٰبُ فَتَرَى ٱلۡمُجۡرِمِينَ مُشۡفِقِينَ مِمَّا فِيهِ وَيَقُولُونَ يَٰوَيۡلَتَنَا مَالِ هَٰذَا ٱلۡكِتَٰبِ لَا يُغَادِرُ صَغِيرَةٗ وَلَا كَبِيرَةً إِلَّآ أَحۡصَىٰهَا ﴾ سورة الكهف: ٤٩

មានន័យថា ៖ *«គេបានដាក់បញ្ជីការងារក្នុងដៃរបស់មនុស្សម្នាក់ៗខាងស្តាំ ឬខាងឆ្វេង។ អ្នកឃើញពួកអ្នកប្រព្រឹត្តល្មើសភ័យស្លន់ស្លោចំពោះអ្វីដែលគេបានកត់ត្រាក្នុងបញ្ជីនោះ។ ពួកគេនិយាយថា វិនាសហើយយើង។ បញ្ជីអ្វីនេះ! ទង្វើទាំងឡាយរបស់យើងទាំងតូចទាំងធំ គេគ្មានទុកចោលឡើយ មានតែកត់ត្រាទុកទាំងអស់»។*

នៅថ្ងៃនោះ ពួកអ្នកគ្មានជំនឿប្រាថ្នាចង់ក្លាយជាដី ដូចទ្រង់បានមានព្រះបន្ទូលថា ៖

﴿ يَوۡمَ يَنظُرُ ٱلۡمَرۡءُ مَا قَدَّمَتۡ يَدَاهُ وَيَقُولُ ٱلۡكَافِرُ يَٰلَيۡتَنِي كُنتُ تُرَٰبَۢا ٤٠ ﴾ سورة النبأ: ٤٠

មានន័យថា ៖ *«នៅថ្ងៃដែលបុគ្គលម្នាក់ៗនឹងមើលឃើញអ្វីដែលខ្លួនបានធ្វើ ហើយអ្នកគ្មានជំនឿនិយាយថា ខ្ញុំនឹកស្រមៃ ចង់ឱ្យខ្លួនខ្ញុំក្លាយជាដីរហូត កុំឱ្យគេយកខ្ញុំទៅជំនុំជម្រះ»។*

ព្រោះតែឋិតក្នុងស្ថានភាពដ៏គួរឱ្យភ័យស្លន់ស្លោនេះ បើសិនជាមនុស្សមានទ្រព្យសម្បត្តិស្មើផែនដីទាំងមូល គឺគេនឹងយកទ្រព្យសម្បត្តិនោះទៅលោះខ្លួនពីទារុណកម្មនៅថ្ងៃនោះ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ وَلَوۡ أَنَّ لِلَّذِينَ ظَلَمُواْ مَا فِي ٱلۡأَرۡضِ جَمِيعٗا وَمِثۡلَهُۥ مَعَهُۥ لَٱفۡتَدَوۡاْ بِهِۦ ﴾ سورة الزمر: ٤٧

មានន័យថា ៖ *«បើសិនជាពួកអ្នកប្រព្រឹត្តអំពើអយុត្តិធម៌មានអ្វីៗដែលនៅលើផែនដីនេះ និងអ្វីដែលស្មើនឹងផែនដីជាកម្មសិទ្ធិរបស់ខ្លួន គឺពួកគេនឹងយកកម្មសិទ្ធិទាំងនោះមកលោះខ្លួន»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា ៖

﴿ يُبَصَّرُونَهُمۡۚ يَوَدُّ ٱلۡمُجۡرِمُ لَوۡ يَفۡتَدِي مِنۡ عَذَابِ يَوۡمِئِذِۭ بِبَنِيهِ ١١ وَصَٰحِبَتِهِۦ وَأَخِيهِ ١٢ وَفَصِيلَتِهِ ٱلَّتِي تُـٔۡوِيهِ ١٣ وَمَن فِي ٱلۡأَرۡضِ جَمِيعٗا ثُمَّ يُنجِيهِ ١٤ ﴾ سورة المعارج: ١١ - ١٤

មានន័យថា ៖ *«មនុស្សអាក្រក់ ប្រាថ្នាចង់លោះខ្លួនពីទារុណកម្មនៅថ្ងៃនោះ ដោយកូនចៅ ប្រពន្ធ បងប្អូន និងកុលសម្ព័ន្ធដែលធ្លាប់ការពារគាំទ្ររូបគេ និងមនុស្សទាំងអស់ដែលរស់នៅលើផែនដី ដើម្បីរួចខ្លួនពីទារុណកម្ម»។*

ឋានបរលោកគឺជាឋានដែលគេត្រូវតបស្នង ពុំមែនជាឋានដែលមានសុវត្ថិភាពនោះទេ។ ដូច្នេះ មនុស្សម្នាក់ៗចាំបាច់ត្រូវតែទទួលការតបស្នងតាមអំពើរបស់គេ ធ្វើល្អបានល្អ ធ្វើអាក្រក់បានអាក្រក់។ ផលអាក្រក់នៃអ្នកគ្មានជំនឿដែលនឹងទទួលនៅឋានបរលោក គឺទារុណកម្មនៅក្នុងភ្លើងនរក។ អល់ឡោះជាម្ចាស់បានបែងចែកប្រភេទ ក្នុងការធ្វើទារុណកម្មលើពួកអ្នកចុះនរក ដើម្បីឱ្យពួកគេភ្លក់រសជាតិទារុណកម្មគ្រប់បែបយ៉ាង។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ هَٰذِهِۦ جَهَنَّمُ ٱلَّتِي يُكَذِّبُ بِهَا ٱلۡمُجۡرِمُونَ ٤٣ يَطُوفُونَ بَيۡنَهَا وَبَيۡنَ حَمِيمٍ ءَانٖ ٤٤ ﴾ سورة الرحمن: ٤٣ - ٤٤

មានន័យថា ៖ *«នេះជាភ្លើងនរកដែលពួកមនុស្សអាក្រក់បានបដិសេធ។ ជួនកាលគេដាក់ទារុណកម្មនឹងភ្លើង ជួនកាលគេដាក់ទារុណកម្មដោយប្រើឱ្យផឹកទឹកពុះក្នុងភ្លើងនរក»។*

អល់ឡោះជាម្ចាស់បានមានបន្ទូលប្រាប់អំពីទឹកផឹក និងសម្លៀកបំពាក់របស់ពួកគេថា ៖

﴿ فَٱلَّذِينَ كَفَرُواْ قُطِّعَتۡ لَهُمۡ ثِيَابٞ مِّن نَّارٖ يُصَبُّ مِن فَوۡقِ رُءُوسِهِمُ ٱلۡحَمِيمُ ١٩ يُصۡهَرُ بِهِۦ مَا فِي بُطُونِهِمۡ وَٱلۡجُلُودُ ٢٠ وَلَهُم مَّقَٰمِعُ مِنۡ حَدِيدٖ ٢١ ﴾ سورة الحج: ١٩ - ٢١

មានន័យថា ៖ *«គេកាត់សម្លៀកបំពាក់អំពីភ្លើងនរកឱ្យទៅពួកអ្នកគ្មានជំនឿ។ គេស្រោចទឹកក្តៅភ្លើងនរកពីលើក្បាលរបស់ពួកគេ។ ទឹកក្តៅក្នុងភ្លើងនរកធ្វើឱ្យអ្វីៗទាំងអស់ដែលមាននៅក្នុងពោះ និងលើស្បែករបស់ពួកគេត្រូវរលួយអស់ ហើយពួកទេវតាវាយក្បាលរបស់ពួកគេនឹងញញួរ»។*

ω ω ω ω ω ω ω

# សេចក្តីបញ្ចប់

ឱ មនុស្សលោកទាំងឡាយ!

កាលដើមឡើយអ្នកទាំងអស់គ្នាមិនទាន់កើតជាអ្វីទាំងអស់ដូចដែលអល់ឡោះបានមានព្រះបន្ទូលថា :

﴿أَوَلَا يَذْكُرُ ٱلْإِنسَٰنُ أَنَّا خَلَقْنَٰهُ مِن قَبْلُ وَلَمْ يَكُ شَيْـًٔا ﴿٦٧﴾﴾ سورة مريم: ٦٧

មានន័យថា : *«តើមនុស្សលោកមិននឹកឃើញទេឬ? យើងបានបង្កើតរូបគេពីមុនមក ហើយរូបគេពុំទាន់កើតជាអ្វីនោះឡើយ»។*

បន្ទាប់មកអល់ឡោះបានបង្កើតគេពីតំណក់ទឹកកាម។ ទ្រង់បានបង្កើតពួកគេឱ្យក្លាយជាមនុស្សចេះស្តាប់ ចេះមើល។ ទ្រង់បានមានព្រះបន្ទូលថា :

﴿هَلْ أَتَىٰ عَلَى ٱلْإِنسَٰنِ حِينٌ مِّنَ ٱلدَّهْرِ لَمْ يَكُن شَيْـًٔا مَّذْكُورًا ﴿١﴾ إِنَّا خَلَقْنَا ٱلْإِنسَٰنَ مِن نُّطْفَةٍ أَمْشَاجٍ نَّبْتَلِيهِ فَجَعَلْنَٰهُ سَمِيعًۢا بَصِيرًا ﴿٢﴾﴾ سورة الإنسان: ١ - ٢

មានន័យថា : *«ជាការពិតណាស់ មុននឹងគេផ្លុំព្រលឹងចូល មនុស្សបានឆ្លងកាត់ពេលវេលាដ៏យូរ គឺគេមិនទាន់កើតជាអ្វីដែលត្រូវលើកមកនិយាយរំឭកអំពីរូបគេ និងមិនទាន់បានបន្សល់ស្នាដៃអ្វីមួយឱ្យគេស្គាល់នោះឡើយ។ ពិតណាស់ យើងបានបង្កើតមនុស្សពីតំណក់ទឹកកាមរបស់បុរសនិងស្ត្រីលាយចូលគ្នា។ យើងសាកល្បងគេ ដោយដាក់កាតព្វកិច្ចឱ្យប្រតិបត្តិ។ ហេតុនេះយើងបង្កើតឱ្យគេចេះស្តាប់និងមើលឃើញ»។*

បន្ទាប់មក គេចាប់ផ្តើមរីកចម្រើន និងវិវឌ្ឍន៍ជាបន្តបន្ទាប់ពីខ្សោយទៅខ្លាំង ហើយទ្រង់នឹងធ្វើឱ្យគេត្រលប់ពីខ្លាំងទៅខ្សោយវិញ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ ٱللَّهُ ٱلَّذِى خَلَقَكُم مِّن ضَعْفٍ ثُمَّ جَعَلَ مِنۢ بَعْدِ ضَعْفٍ قُوَّةً ثُمَّ جَعَلَ مِنۢ بَعْدِ قُوَّةٍ ضَعْفًا وَشَيْبَةً يَخْلُقُ مَا يَشَآءُ وَهُوَ ٱلْعَلِيمُ ٱلْقَدِيرُ ﴿٥٤﴾ ﴾ سورة الروم: ٥٤

មានន័យថា ៖ «*អល់ឡោះជាម្ចាស់បានបង្កើតពួកអ្នកពីភាពទន់ខ្សោយ បន្ទាប់ពីទន់ខ្សោយទ្រង់ធ្វើឱ្យរឹងមាំ។ បន្ទាប់ពីរឹងមាំទ្រង់ធ្វើឱ្យទន់ខ្សោយវិញ និងចាស់សក់ស្កូវ។ ទ្រង់បង្កើតតាមអ្វីដែលទ្រង់សព្វព្រះទ័យ។ ទ្រង់មហាដឹង មានអានុភាពខ្លាំងក្លាបំផុត*»។

នៅទីបញ្ចប់ម្នាក់ៗដឹងច្បាស់ថា នឹងត្រូវស្លាប់ ហើយក្នុងដំណាក់កាលទាំងនេះ គេនឹងផ្លាស់ប្តូរពីដំណាក់កាលទន់ខ្សោយទៅកាន់ដំណាក់កាលទន់ខ្សោយកាន់តែខ្លាំង មិនអាចការពារខ្លួនឯងពីគ្រោះថ្នាក់បាន មិនអាចផ្តល់ប្រយោជន៍ដល់ខ្លួនឯង លើកលែងតែមានការគាំទ្រពីអល់ឡោះជាម្ចាស់ដោយពរជ័យរបស់ទ្រង់រួមមាន ៖ កម្លាំង អំណាច និងស្បៀងអាហារ។ តាមនិស្ស័យពីកំណើត គឺអ្នកមានការខ្វះខាត នឹងត្រូវការជំនួយ។ មានតម្រូវការចាំបាច់ជាច្រើនដែលអ្នកត្រូវការ ដើម្បីរក្សាជីវិតរបស់អ្នក តែតម្រូវការទាំងនោះមិនឋិតនៅក្នុងដៃរបស់អ្នកនោះទេ។ ជួនកាលអ្នកយកបាន ហើយជួនខ្លះទៀតគេដកយកពីអ្នកទៅវិញ។ មានរបស់មានប្រយោជន៍ជាច្រើនដែលអ្នកចង់បាន តែអ្នកមិនអាចយកបាន។ ជួនកាលអ្នកអាចយកមកបាន ដោយជោគជ័យ ហើយជួនកាលទៀតអ្នកយកមិនបានសម្រេច។ ជួនកាលបញ្ហាខ្លះធ្វើឱ្យអ្នក

គ្រោះថ្នាក់ ធ្វើឱ្យអ្នកខកបំណង ធ្វើឱ្យការខិតខំប្រឹងប្រែងរបស់អ្នកក្លាយជាអសារបង់។ បញ្ហាទាំងនេះធ្វើឱ្យប៉ះពាល់ និងខូចប្រយោជន៍ដល់អ្នក។ អ្នកចង់បញ្ចៀសវាចេញពីខ្លួនអ្នក។ ជួនកាលអ្នកអាចបញ្ចៀសបាន ហើយជួនពេលខ្លះអ្នកបែរជាអសមត្ថភាព។ តើអ្នកមិនចាប់អារម្មណ៍ពីកង្វះខាតនេះ និងតម្រូវការរបស់អ្នកចំពោះអល់ឡោះជាម្ចាស់ទេឬ? អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ يَٰٓأَيُّهَا ٱلنَّاسُ أَنتُمُ ٱلۡفُقَرَآءُ إِلَى ٱللَّهِۖ وَٱللَّهُ هُوَ ٱلۡغَنِيُّ ٱلۡحَمِيدُ ١٥ ﴾ سورة فاطر: ١٥

មានន័យថា : *«នែមនុស្សលោកទាំងឡាយ! ពួកអ្នកក្រីក្រខ្វះខាតត្រូវការពឹងអាស្រ័យចំពោះអល់ឡោះ ហើយអល់ឡោះទ្រង់មហាមានស្តុកស្តម្ភ មហាប្រសើរ»។*

វីរុសជំងឺដ៏ទន់ខ្សោយមើលនឹងភ្នែកផ្ទាល់មិនឃើញ នៅពេលអ្នកប៉ះវីរុសនេះ អ្នកនឹងធ្លាក់ខ្លួនឈឺ។ អ្នកមិនអាចទប់ស្កាត់ការពារវីរុសបាន ហើយអ្នកក៏ទៅជួបមនុស្សទន់ខ្សោយដូចគ្នាឱ្យគេព្យាបាល។ ជួនកាលព្យាបាលជា ជួនកាលព្យាបាលមិនជា។ ដូច្នេះទាំងអ្នកជំងឺ ទាំងលោកគ្រូពេទ្យទាល់គំនិតមិនដឹងជាធ្វើដូចម្តេចនោះទេ។

មនុស្សយើងទន់ខ្សោយបំផុត។ បើសិនជាសត្វរុយមកពាំចំណីយកទៅបាត់ គឺយើងមិនអាចដណ្តើមយកចំណីនោះត្រលប់មកវិញបានឡើយ។ នេះដូចនឹងបន្ទូលរបស់អល់ឡោះ ដែលទ្រង់បានមានព្រះបន្ទូលថា :

﴿ يَـٰٓأَيُّهَا ٱلنَّاسُ ضُرِبَ مَثَلٌ فَٱسۡتَمِعُواْ لَهُۥٓۚ إِنَّ ٱلَّذِينَ تَدۡعُونَ مِن دُونِ ٱللَّهِ لَن يَخۡلُقُواْ ذُبَابًا وَلَوِ ٱجۡتَمَعُواْ لَهُۥۖ وَإِن يَسۡلُبۡهُمُ ٱلذُّبَابُ شَيۡـًٔا لَّا يَسۡتَنقِذُوهُ مِنۡهُۚ ضَعُفَ ٱلطَّالِبُ وَٱلۡمَطۡلُوبُ ﴿٧٣﴾ ﴾ سورة الحج: ٧٣

មានន័យថា ៖ *«នែមនុស្សលោកទាំងឡាយ! គេបានលើកឧទាហរណ៍មួយ ចូរអ្នកត្រង់ត្រាប់ស្តាប់នូវឧទាហរណ៍នេះ។ ពិតប្រាកដ រូបសំណាកព្រះដែលពួកអ្នកកំពុងបួងសួងសុំក្រៅពីអល់ឡោះជាម្ចាស់ រូបសំណាកព្រះទាំងនោះមិនអាចបង្កើតរុយមួយកើតទេ បើទោះជាពួកគេសហការគ្នាក៏ដោយ ក៏ធ្វើមិនកើតដែរ។ បើសិនជារុយពាំយកអ្វីពីពួកគេ ពួកគេមិនអាចដណ្តើមយកពីរុយមកវិញបានឡើយ។ ទាំងរូបសំណាក និងសត្វរុយគឺទន់ខ្សោយដូចគ្នា»។*

បើសិនជាអ្នកមិនអាចសង្គ្រោះយកមកវិញបាននូវអ្វីដែលរុយបានពាំយកទៅនោះ តើអ្នកមានអំណាចអាចធ្វើអ្វីបាន? (វាសនារបស់អ្នក ជីវិតរបស់អ្នកឋិតក្នុងកណ្តាប់ដៃរបស់អល់ឡោះ។ បេះដូងរបស់អ្នកឋិតនៅចន្លោះម្រាមដៃទាំងពីររបស់ទ្រង់។ ទ្រង់អាចផ្លាស់ប្តូរចិត្តរបស់អ្នកពេលណាក៏បាន តាមតែទ្រង់សព្វព្រះទ័យ។ ជីវិតរស់នៅ និងការស្លាប់របស់អ្នក ឋិតក្នុងកណ្តាប់ដៃរបស់ទ្រង់។ សំណាងល្អ និងសំណាងអាក្រក់របស់អ្នកឋិតក្នុងកណ្តាប់ដៃរបស់ទ្រង់។ ការកម្រើក និងការនៅស្ងៀមរបស់អ្នក សម្តីរបស់អ្នកប្រព្រឹត្តទៅបាន លុះត្រាតែមានការអនុញ្ញាត និងតាមការប្រាថ្នារបស់ទ្រង់។ អ្នកមិនអាចកម្រើកបាន លើកលែងតែមានការអនុញ្ញាពីទ្រង់។ អ្នកមិនអាចធ្វើអ្វីបាន លើកលែងតែតាមសេចក្តីប្រាថ្នារបស់ទ្រង់។ បើសិនជាអ្នកពឹងផ្អែកលើខ្លួនឯង គឺអ្នក

ពឹងផ្អែកលើបុគ្គលម្នាក់ដែលអសមត្ថភាព ទន់ខ្សោយ ងាយធ្លាក់ខ្លួនក្នុងអំពើបាប។ បើសិនជាអ្នកពឹងផ្អែកលើអ្នកផ្សេង គឺអ្នកបានពឹងផ្អែកលើអ្នកដែលគ្មានសិទ្ធិអំណាចបង្កគ្រោះថ្នាក់ និងផ្តល់ផលប្រយោជន៍ មិនអាចធ្វើឱ្យអ្នកស្លាប់ មិនអាចធ្វើអ្នករស់ ហើយក៏មិនអាចធ្វើឱ្យអ្នករស់ឡើងវិញដែរ។ អ្នកមិនអាចខ្វះអល់ឡោះជាម្ចាស់ សូម្បីមួយពព្រិចភ្នែក។ អ្នកត្រូវបង្ខំចិត្តពឹងផ្អែកចំពោះទ្រង់ក្នុងមួយជីវិតរបស់អ្នក គ្រប់ដង្ហើមចេញចូល រឿងរ៉ាវក្នុងចិត្ត និងខាងក្រៅ។ ទ្រង់បានប្រទានពរជ័យសព្វបែបយ៉ាងដល់អ្នក។ តែអ្នកបែរជាធ្វើឱ្យទ្រង់ក្រោធខឹងដោយអំពើបាប គ្មានជំនឿ ត្បិតខ្លួនត្រូវការចាំបាច់យ៉ាងខ្លាំងចំពោះទ្រង់សម្រាប់គ្រប់ផ្នែកទាំងអស់។ តែអ្នកបែរជាភ្លេចគិតចំពោះទ្រង់ ហើយទីវិលត្រលប់របស់អ្នកនឹងទៅរកទ្រង់ និងឈរនៅចំពោះមុខទ្រង់)។



នែមនុស្សលោកទាំងឡាយ! ដោយភាពទន់ខ្សោយ និងអសមត្ថភាពរបស់អ្នក អ្នកមិនអាចស៊ូទ្រាំនឹងផលវិបាកនៃអំពើបាបរបស់អ្នកទេ។ ទ្រង់បានមានព្រះបន្ទូលថា ៖

﴿ يُرِيدُ ٱللَّهُ أَن يُخَفِّفَ عَنكُمْۚ وَخُلِقَ ٱلْإِنسَٰنُ ضَعِيفٗا ٢٨ ﴾ النساء: ٢٨

មានន័យថា ៖ *«អល់ឡោះជាម្ចាស់សព្វព្រះទ័យចង់សម្រាលបន្ទុកដ៏ធ្ងន់ពីពួកអ្នក ហើយគេបង្កើតមនុស្សជាសភាវៈដែលទន់ខ្សោយ»។*

អល់ឡោះជាម្ចាស់ទ្រង់បានបញ្ជូនពួកអ្នកនាំសារ ប្រទានព្រះគម្ពីរចុះមក បញ្ញត្តិច្បាប់ និងតម្រង់ផ្លូវដល់អ្នក។ ទ្រង់បានបង្ហាញនូវការបកស្រាយ ភស្តុតាង សាក្សី និងអំណះអំណាងផ្សេងៗ។ អ្វីៗគ្រប់

យ៉ាងដែលទ្រង់បានបង្ហាញដល់អ្នក សុទ្ធតែមានសញ្ញាភស្តុតាងបញ្ជាក់ពីភាពតែមួយរបស់ទ្រង់ ភាពជាម្ចាស់ និងភាពជាព្រះដែលគេត្រូវគោរពសក្ការៈ។ ប៉ុន្តែអ្នកបែរជាបដិសេធការពិត រួចជ្រើសយកផ្លូវខុស ហើយយកបិសាចជាម្ចាស់ក្រៅពីអល់ឡោះ ខំប្រឹងប្រកែកទាំងខុសឆ្គង។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَكَانَ ٱلۡإِنسَٰنُ أَكۡثَرَ شَيۡءٖ جَدَلٗا ﴾ سورة الكهف: ٥٤

មានន័យថា : «*ពិតណាស់ មនុស្សជាសភាវៈដែលពូកែឈ្លោះប្រកែកច្រើនជាងគេ*»។

ពរជ័យរបស់អល់ឡោះដែលអ្នកកំពុងសោយសុខតាំងពីដើមដល់ចប់ បានធ្វើឱ្យអ្នកភ្លេចខ្លួន។ ជាដំបូងអ្នកត្រូវរំឭកឡើងវិញថា អ្នកកើតមកពីតំណក់ទឹកកាម។ ទីវិលត្រលប់របស់អ្នកគឺរណ្តៅក្នុងដី ហើយទីរស់ឡើងវិញនៅថ្ងៃបរលោក ជូនទៅឋានសួគ៌ ឬទៅឋាននរក។ អល់ឡោះបានមានព្រះបន្ទូលថា :

﴿ أَوَلَمۡ يَرَ ٱلۡإِنسَٰنُ أَنَّا خَلَقۡنَٰهُ مِن نُّطۡفَةٖ فَإِذَا هُوَ خَصِيمٞ مُّبِينٞ ٧٧ وَضَرَبَ لَنَا مَثَلٗا وَنَسِيَ خَلۡقَهُۥۖ قَالَ مَن يُحۡيِ ٱلۡعِظَٰمَ وَهِيَ رَمِيمٞ ٧٨ قُلۡ يُحۡيِيهَا ٱلَّذِيٓ أَنشَأَهَآ أَوَّلَ مَرَّةٖۖ وَهُوَ بِكُلِّ خَلۡقٍ عَلِيمٌ ٧٩ ﴾ سورة يس: ٧٧ - ٧٩

មានន័យថា : «*តើមនុស្សមិនឃើញទេឬថា យើងបានបង្កើតរូបគេពីតំណក់ទឹកកាម ស្រាប់តែគេក្លាយទៅជាអ្នកដែលពូកែឈ្លោះប្រកែកយ៉ាងខ្លាំងក្លា។ គេបានលើកជាឧទាហរណ៍ដាក់ឱ្យយើង ហើយគេភ្លេចពីកំណើតរបស់ខ្លួនឯង។ គេនិយាយថា តើនរណាអាចបង្កើតគ្រោងឆ្អឹង*

*ដែលរទ្បេះរលួយឱ្យរស់ឡើងវិញបាន? មូហាំម៉ាត់ ចូរអ្នកប្រាប់គេថា អ្នកដែលបង្កើតវាឱ្យរស់ឡើងវិញគឺអ្នកដែលបានបង្កើតវាកាលពីដំបូងនោះឯង»។ ទ្រង់មានពុទ្ធិដឹងអំពីរាល់ការបង្កើតទាំងឡាយ»។*

អល់ឡោះជាម្ចាស់បានមានព្រះនូ្វលថា :

﴿ يَٰٓأَيُّهَا ٱلۡإِنسَٰنُ مَا غَرَّكَ بِرَبِّكَ ٱلۡكَرِيمِ ٦ ٱلَّذِي خَلَقَكَ فَسَوَّىٰكَ فَعَدَلَكَ ٧ فِيٓ أَيِّ صُورَةٖ مَّا شَآءَ رَكَّبَكَ ٨ ﴾ سورة الانفطار: ٦ - ٨

មានន័យថា : *«មនុស្សលោកទាំងឡាយ! តើមានអ្វីធ្វើឱ្យអ្នកក្រអឺតក្រទមចំពោះព្រះជាម្ចាស់របស់អ្នកដ៏មហាមេត្តា? ទ្រង់ជាព្រះដែលបានបង្កើតអ្នក។ ទ្រង់បានបង្កើតរូបសម្បត្តិរបស់អ្នកដ៏ល្អឥតខ្ចោះ ហើយទ្រង់កែតម្រង់អ្នក។ ទ្រង់បង្កើតអ្នកក្នុងរូបលក្ខណៈណាមួយតាមតែទ្រង់សព្វព្រះទ័យ»។*

នែមនុស្សលោកទាំងឡាយ! ហេតុអ្វីបានជាអ្នកហាមខ្លួនឯងពីការឈរបួងសួង ចរចារជាមួយនឹងអល់ឡោះ ដើម្បីឱ្យទ្រង់សង្គ្រោះអ្នកពីភាពខ្វះខាត សង្គ្រោះអ្នកឱ្យជាពីជំងឺ សង្គ្រោះអ្នកឱ្យរួចផុតពីគ្រោះភ័យ។ ទ្រង់អភ័យទោសដល់អ្នក សង្គ្រោះអ្នកឱ្យរួចផុតពីគ្រោះថ្នាក់ សង្គ្រោះអ្នកពីការធ្វើអំពើបាប។ ទ្រង់ជួយចង្អុលបង្ហាញផ្លូវនៅពេលអ្នកទាល់គំនិត និងវង្វេងស្មារតី។ ចូរអ្នកបួងសួងសុំឱ្យទ្រង់សង្គ្រោះអ្នកពីភាពអវិជ្ជា។ ទ្រង់ផ្តល់សុវត្ថិភាពដល់អ្នក នៅពេលអ្នកមានការភ័យខ្លាច។ ទ្រង់អាណិតស្រលាញ់អ្នកនៅពេលអ្នកទន់ខ្សោយ។ ទ្រង់បញ្ចៀសអ្នកពីសត្រូវឈ្លានពាន ហើយទ្រង់ប្រទានដល់អ្នកនូវលាភសក្ការៈ ដើម្បីផ្គត់ផ្គង់ដល់ជីវភាពរស់នៅរបស់អ្នក។

នៃមនុស្សលោកទាំងឡាយ! ពរជ័យដ៏ធំបំផុតរបស់អល់ឡោះជាម្ចាស់ គឺទ្រង់បានប្រទានចំពោះមនុស្សលោក បន្ទាប់ពីពរជ័យសាសនា គឺពរជ័យប្រាជ្ញា ដើម្បីឱ្យអ្នកចេះបែងចែករវាងអ្វីដែលមានប្រយោជន៏ និងអ្វីដែលគ្រោះថ្នាក់ ចេះបែងចែកនូវអ្វីដែលអល់ឡោះបានបង្គាប់ប្រើ និងហាមឃាត់ ឱ្យស្គាល់ពីគោលបំណងដ៏ធំ គឺការគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់តែមួយគត់។ ទ្រង់គ្មានដៃគូ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَا بِكُم مِّن نِّعۡمَةٖ فَمِنَ ٱللَّهِۖ ثُمَّ إِذَا مَسَّكُمُ ٱلضُّرُّ فَإِلَيۡهِ تَجۡـَٔرُونَ ٥٣ ثُمَّ إِذَا كَشَفَ ٱلضُّرَّ عَنكُمۡ إِذَا فَرِيقٞ مِّنكُم بِرَبِّهِمۡ يُشۡرِكُونَ ٥٤ ﴾ سورة النحل: ٥٣ - ٥٤

មានន័យថា :«*រាល់ពរជ័យដែលពួកអ្នកទទួលបានគឺមកអំពីអល់ឡោះ។ បន្ទាប់មក បើសិនជាគ្រោះថ្នាក់អ្វីមួយប៉ះពាល់ដល់ពួកអ្នក គឺពួកអ្នកយំសោកអង្វរករចំពោះទ្រង់។ លុះដល់ពេលទ្រង់សង្គ្រោះពួកអ្នកឱ្យរួចផុត ស្រាប់តែមានមនុស្សមួយក្រុមក្នុងចំណោមពួកអ្នក បែរជាគោរពពហុទេពចំពោះព្រះជាម្ចាស់របស់ពួកគេទៅវិញ*»។

នៃមនុស្សលោកទាំងឡាយ! ពិតណាស់ មនុស្សដែលមានប្រាជ្ញាតែងប្រាថ្នាចង់បាននូវអ្វីដែលខ្ពង់ខ្ពស់ថ្លៃថ្នូរ ស្អប់ខ្ពើមចំពោះអ្វីដែលអាប់ឱន និងគ្មានសេចក្តីថ្លៃថ្នូរ ប្រាថ្នាចង់យកគំរូតាមបុគ្គលល្អៗ ប្រពៃថ្លៃថ្លា ដូចជាពួកអ្នកនាំសាររបស់ព្រះ ពួកអ្នកមានកុសលធមិ ស្វះស្វែងខិតខំ ដើម្បីប្រតិបត្តិតាមពួកគេ។ បើសិនជាពួកគេមិនអាចធ្វើបានទេ នៅមានផ្លូវដែលពួកគេឈានទៅដល់គោលដៅ គឺផ្លូវដែលអល់ឡោះជាម្ចាស់ចង្អុលបង្ហាញ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ قُلۡ إِن كُنتُمۡ تُحِبُّونَ ٱللَّهَ فَٱتَّبِعُونِي يُحۡبِبۡكُمُ ٱللَّهُ ﴾ سورة آل عمران: ٣١

មានន័យថា : «*បើសិនជាពួកអ្នកស្រលាញ់អល់ឡោះ ចូរប្រតិបត្តិតាមខ្ញុំ គឺអល់ឡោះទ្រង់នឹងស្រលាញ់សព្វព្រះទ័យចំពោះពួកអ្នក*»។

បើសិនជាគេអនុវត្តបានដូច្នោះ អល់ឡោះទ្រង់នឹងយកគេទៅដាក់ជាមួយនឹងពួកណាពី ពួកអ្នកនាំសារ ពួកអ្នកពលីជីវិត ពួកអ្នកមានកុសលធម៌។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ وَمَن يُطِعِ ٱللَّهَ وَٱلرَّسُولَ فَأُوْلَٰٓئِكَ مَعَ ٱلَّذِينَ أَنۡعَمَ ٱللَّهُ عَلَيۡهِم مِّنَ ٱلنَّبِيِّـۧنَ وَٱلصِّدِّيقِينَ وَٱلشُّهَدَآءِ وَٱلصَّٰلِحِينَۚ وَحَسُنَ أُوْلَٰٓئِكَ رَفِيقٗا ٦٩ ﴾ سورة النساء: ٦٩

មានន័យថា : «*អ្នកណាគោរពប្រតិបត្តិចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ គឺនឹងបាននៅជាមួយពួកអ្នកដែលអល់ឡោះបានប្រទានពរជ័យដល់ពួកគេនៃពួកណាពី ពួកអ្នកស្មោះត្រង់ ពួកអ្នកពលីជីវិត និងពួកអ្នកមានកុសលធម៌។ ពួកគេរួមរស់ជាមិត្តមេត្រីភាពក្នុងឋានសួគ៌*»។



នែមនុស្សលោកទាំងឡាយ! ខ្ញុំចង់ទូន្មានឱ្យអ្នកនៅម្នាក់ឯង ហើយគិតពិចារណាពីការពិតដែលបានមកដល់។ សូមពិនិត្យមើលអំណះអំណាង និងស្វែងយល់ពីភស្តុតាងទាំងឡាយ។ បើអ្នកគិតឃើញថា «ត្រឹមត្រូវ» សូមអ្នកប្រកាន់តាមការពិតនេះចុះ។ ចូរកុំទុកខ្លួនឯងជាទាសករ និងជាចំណាប់ខ្មាំងនៃទំនៀមទម្លាប់ប្រពៃណី។ ខ្លួនរបស់អ្នកមានតម្លៃជាងអ្វីទាំងអស់ ជាងដៃគូរបស់អ្នក ជាងគ្រួសាររបស់អ្នក ជាងកេរមតិកជីដូនជីតារបស់អ្នក។ ពិតណាស់ អល់ឡោះជាម្ចាស់បានទូ

ន្ទានចំពោះពួកអ្នកគ្មានជំនឿ និងជំរុញឱ្យពួកគេជឿទុកចិត្តចំពោះទ្រង់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ قُلۡ إِنَّمَآ أَعِظُكُم بِوَٰحِدَةٍۖ أَن تَقُومُواْ لِلَّهِ مَثۡنَىٰ وَفُرَٰدَىٰ ثُمَّ تَتَفَكَّرُواْۚ مَا بِصَاحِبِكُم مِّن جِنَّةٍۚ إِنۡ هُوَ إِلَّا نَذِيرٞ لَّكُم بَيۡنَ يَدَيۡ عَذَابٖ شَدِيدٖ ﴿٤٦﴾ ﴾ سورة سبأ: ٤٦

មានន័យថា : *«មូហាំម៉ាត់ ចូរអ្នកមានប្រសាសន៍ទៅកាន់ពួកអ្នកបដិសេធនឹងជំនឿទាំងនោះថា ខ្ញុំទូន្មានពួកអ្នកឱ្យប្រកាន់យកនូវប្រការមួយគឺ**ការប្រតិបត្តិចំពោះអល់ឡោះ** ដោយគ្នាពីរនាក់ និងម្នាក់ឯង រួចហើយចូរអ្នកគិតពិចារណាពីស្ថានភាពអ្នកនាំសាររបស់ពួកអ្នក។ គេពុំមែនឆ្កួតលីលាដូចពួកអ្នកចោទប្រកាន់នោះទេ។ ប៉ុន្តែគេគ្រាន់តែជាអ្នកដាស់តឿនពួកអ្នកមុននឹងទារុណកម្មនៃភ្លើងនរកកើតឡើងចំពោះពួកអ្នកតែប៉ុណ្ណោះ»។*

នែមនុស្សលោកទាំងឡាយ! នៅពេលដែលអ្នកចុះចូលជាមួយព្រះ អ្នកនឹងពុំខាតបង់អ្វីនោះទេ។ ទ្រង់បានមានព្រះបន្ទូលថា :

﴿ وَمَاذَا عَلَيۡهِمۡ لَوۡ ءَامَنُواْ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ وَأَنفَقُواْ مِمَّا رَزَقَهُمُ ٱللَّهُۚ وَكَانَ ٱللَّهُ بِهِمۡ عَلِيمًا ﴿٣٩﴾ ﴾ سورة النساء: ٣٩

មានន័យថា : *«តើមានគ្រោះថ្នាក់អ្វីកើតឡើងចំពោះពួកគេ បើសិនជាពួកគេមានជំនឿចំពោះអល់ឡោះ និងថ្ងៃបរលោក ប្រតិបត្តិអំពើល្អចំណាយទ្រព្យមួយចំនួនដែលទ្រង់បានប្រទានដល់ពួកគេ។ អល់ឡោះដឹងច្បាស់អំពីពួកគេ»។*

**លោកអ៊ិបនូកាសៀរ** បានបកស្រាយថា ៖ «តើមានអ្វីគ្រោះថ្នាក់ដល់ពួកគេ? បើសិនជាពួកគេមានជំនឿចំពោះអល់ឡោះ និងថ្ងៃបរលោក ដើរតាមផ្លូវល្អ មានជំនឿចំពោះអល់ឡោះ។ សង្ឃឹមចំពោះការសន្យារបស់ទ្រង់នៅថ្ងៃបរលោក សម្រាប់អ្នកដែលបានសាងកុសលធម៌។ បរិច្ចាគ ទ្រព្យខ្លះដែលអល់ឡោះបានប្រទានដល់រូបគេ ក្នុងផ្លូវដែលអល់ឡោះសព្វព្រះទ័យ។ ទ្រង់ដឹងច្បាស់ពីបំណងប្រាថ្នារបស់ពួកគេល្អអាក្រក់។ ទ្រង់ដឹងច្បាស់ពីនរណាដែលសក្តិសមនឹងទទួលបានការចង្អុលបង្ហាញ ហើយទ្រង់នឹងចង្អុលបង្ហាញដល់រូបគេ។ ទ្រង់ធ្វើឱ្យអ្នកនោះផ្សារភ្ជាប់នឹងអំពើល្អ ដើម្បីឱ្យទ្រង់សព្វព្រះទ័យចំពោះរូបគេ។ ទ្រង់ដឹងច្បាស់ពីអ្នកដែលសក្តិសមនឹងដេញចេញ និងបោះបង់ចោល។ ដូច្នេះ អ្នកណាដែលទ្រង់បានដេញចេញពីទ្វាររបស់ទ្រង់ គឺគេច្បាស់ជាខាតបង់ ខកបំណងទាំងក្នុងលោកីយ៍ និងនៅបរលោក»។ ការចូលសាសនាឥស្លាមរបស់អ្នកមិនបានរារាំងអ្នកពីអ្វីដែលអ្នកចង់ធ្វើ ឬចង់ទទួលយកនូវអ្វីដែលទ្រង់បានអនុញ្ញាតនោះទេ។ តែទ្រង់ថែមទាំងផ្តល់ផលបុណ្យចំពោះអ្នករាល់ការងារដែលអ្នកធ្វើក្នុងបំណងចង់បានផលបុណ្យពីទ្រង់។ ដ្បិតការងារនោះជាប្រយោជន៍លោកីយ៍ ធ្វើឱ្យអ្នកមានទ្រព្យសម្បត្តិស្តុកស្តម្ភ ឬឡើងបុណ្យសក្តិ ឬមានកិត្តិយស។ ជាការពិតណាស់ រាល់ការងារអ្វីដែលច្បាប់អនុញ្ញាត ហើយអ្នកធ្វើវាដោយគិតថាវាគ្រប់គ្រាន់សម្រាប់អ្នក មិនចាំបាច់ទៅធ្វើអំពើខុសច្បាប់នោះ គឺអ្នកនឹងទទួលបានផលបុណ្យ។ អ្នកនាំសារមូហាំម៉ាត់មានប្រសាសន៍ថា ៖

قال رسول الله صلى الله عليه وسلم: ( وفي بضع أحدكم صدقة قال قالوا يا رسول الله أيأتي أحدنا شهوته يكون له فيها أجر قال أرأيتم لو وضعها في الحرام أكان عليه فيها وزر وكذلك إذا وضعها في الحلال كان له فيها أجر ) مسند الإمام أحمد

មានន័យថា : *«ការរួមរួមរ័ករបស់ពួកអ្នកក៏ជាការដាក់ទានដែរ។ ពួកគេសួរថា បពិត្រអ្នកនាំសាររបស់អល់ឡោះ តើគ្រាន់តែរួមរ័កជាមួយប្រពន្ធក៏មានផលបុណ្យដែរមែនទេ? គាត់បានមានប្រសាសន៍ថា តើពួកអ្នកយល់យ៉ាងម៉េចដែរ បើសិនជាគេទៅប្រព្រឹត្តអំពើផិត? តើគេទទួលបានបាបដែរទេ? ដូចគ្នាដែរ បើគេបំពេញតណ្ហាតាមអ្វីដែលច្បាប់អនុញ្ញាត គឺគេទទួលបានផលបុណ្យ»។*

នែមនុស្សលោកទាំងឡាយ! ពួកអ្នកនាំសារបានពាំនាំមកនូវការពិត។ ពួកគេបានផ្តល់ជូននូវអ្វីដែលជាបំណងប្រាថ្នារបស់អល់ឡោះ។ មនុស្សត្រូវការជាចាំបាច់ក្នុងការស្គាល់ច្បាប់បញ្ញត្តិរបស់អល់ឡោះ ដើម្បីឱ្យដំណើរជីវិតរបស់គេឋិតនៅក្នុងចក្ខុវិស័យច្បាស់លាស់ ហើយនៅថ្ងៃបរលោកឋិតក្នុងចំណោមពួកអ្នកដែលជោគជ័យ។ អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលថា :

﴿ يَٰٓأَيُّهَا ٱلنَّاسُ قَدۡ جَآءَكُمُ ٱلرَّسُولُ بِٱلۡحَقِّ مِن رَّبِّكُمۡ فَـَٔامِنُواْ خَيۡرٗا لَّكُمۡۚ وَإِن تَكۡفُرُواْ فَإِنَّ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَكَانَ ٱللَّهُ عَلِيمًا حَكِيمٗا ١٧٠ ﴾ سورة النساء: ١٧٠

មានន័យថា : *«នែមនុស្សលោកទាំងឡាយ! ពិតណាស់ អ្នកនាំសារដែលនាំការពិតពីព្រះជាម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នកហើយ។ ចូរពួកអ្នកមានជំនឿ គឺជាការប្រសើរសម្រាប់ពួកអ្នក។ បើសិនជាពួកអ្នកប្រឆាំងជំទាស់ ជាការពិតណាស់សម្រាប់អល់ឡោះ គឺអ្វីៗដែលនៅ*

*លើមេឃទាំងប្រាំពីរជាន់ និងផែនដី ហើយអល់ឡោះមហាដឹងប្រកប ដោយគតិបណ្ឌិត»។*

អល់ឡោះជាម្ចាស់បានមានព្រះបន្ទូលទៀតថា ៖

﴿ قُلْ يَٰٓأَيُّهَا ٱلنَّاسُ قَدْ جَآءَكُمُ ٱلْحَقُّ مِن رَّبِّكُمْ ۖ فَمَنِ ٱهْتَدَىٰ فَإِنَّمَا يَهْتَدِى لِنَفْسِهِۦ ۖ وَمَن ضَلَّ فَإِنَّمَا يَضِلُّ عَلَيْهَا ۖ وَمَآ أَنَا۠ عَلَيْكُم بِوَكِيلٍ ﴿١٠٨﴾ ﴾ سورة يونس: ١٠٨

មានន័យថា ៖ *«មូហាំម៉ាត់ ចូរអ្នកប្រសាសន៍ថា នែមនុស្សលោកទាំងឡាយ! សេចក្ដីពិតពីព្រះជាម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នកហើយ។ ដូច្នេះអ្នកណាចង់ទទួលយកនូវការចង្អុលបង្ហាញ គឺគេទទួលការចង្អុលបង្ហាញសម្រាប់ខ្លួនឯង ហើយអ្នកណាចង់វង្វេង គឺគេជាអ្នកធ្វើឱ្យខ្លួនឯងវង្វេង។ ខ្ញុំពុំមែនជាអ្នកទទួលខុសត្រូវចំពោះពួកអ្នកនោះទេ»។*

នែមនុស្សលោកទាំងឡាយ! បើសិនជាអ្នកចូលឥស្លាម អ្នកគ្មានផ្ដល់ផលប្រយោជន៍ដល់នរណាម្នាក់ក្រៅពីខ្លួនឯងនោះទេ ហើយបើសិនជាអ្នកគ្មានជំនឿអ្នកនឹងគ្មានបង្កគ្រោះថ្នាក់ដល់នរណាម្នាក់ក្រៅពីខ្លួនឯងនោះដែរ។ ពិតណាស់ អល់ឡោះមិនត្រូវការមនុស្សលោកនោះទេ។ គ្មានអំពើបាបរបស់បុគ្គលណាម្នាក់ធ្វើឱ្យទ្រង់ទទួលរងគ្រោះថ្នាក់ ហើយគ្មានការគោរពប្រតិបត្តិរបស់នរណាម្នាក់ធ្វើឱ្យទ្រង់ទទួលបានប្រយោជន៍នោះដែរ។ មិនមាននរណាម្នាក់ប្រព្រឹត្តបាបកម្ម ហើយគ្មាននរណាគោរពប្រតិបត្តិបានសម្រេច លើកលែងមានការអនុញ្ញាតពីទ្រង់។ ជាការពិតណាស់ ទ្រង់បានមានព្រះបន្ទូលតាមរយៈប្រសាសន៍របស់ណាពីមូហាំម៉ាត់ថា ៖

عن أبي ذرعن النبي صلى الله عليه وسلم فيما روى عن الله تبارك وتعالى أنه قال يا عبادي إني حرمت الظلم على نفسي وجعلته بينكم محرما فلا تظالموا يا عبادي كلكم ضال إلا من هديته فاستهدوني أهدكم يا عبادي كلكم جائع إلا من أطعمته فاستطعموني أطعمكم يا عبادي كلكم عار إلا من كسوته فاستكسوني أكسكم يا عبادي إنكم تخطئون بالليل والنهار وأنا أغفر الذنوب جميعا فاستغفروني أغفر لكم يا عبادي إنكم لن تبلغوا ضري فتضروني ولن تبلغوا نفعي فتنفعوني يا عبادي لو أن أولكم وآخركم وإنسكم وجنكم كانوا على أتقى قلب رجل واحد منكم ما زاد ذلك في ملكي شيئا يا عبادي لو أن أولكم وآخركم وإنسكم وجنكم كانوا على أفجر قلب رجل واحد ما نقص ذلك من ملكي شيئا يا عبادي لو أن أولكم وآخركم وإنسكم وجنكم قاموا في صعيد واحد فسألوني فأعطيت كل إنسان مسألته ما نقص ذلك مما عندي إلا كما ينقص المخيط إذا أدخل البحر يا عبادي إنما هي أعمالكم أحصيها لكم ثم أوفيكم إياها فمن وجد خيرا فليحمد الله ومن وجد غير ذلك فلا يلومن إلا نفسه

មានន័យថា : « *នែខ្ញុំបម្រើរបស់យើង! យើងបានដាក់ច្បាប់ហាមអំពើអយុត្តិធម៌ចំពោះខ្លួនយើងផ្ទាល់ ហើយយើងបានហាមចំពោះពួកអ្នក។ ដូច្នេះ ចូរអ្នកកុំប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះគ្នាឱ្យសោះ។ នែខ្ញុំបម្រើរបស់យើង! ពួកអ្នកទាំងអស់គ្នាសុទ្ធតែវង្វេង លើកលែងតែអ្នកដែលយើងបានចង្អុលបង្ហាញដល់គេ។ ដូច្នេះ ចូរអ្នកបួងសួងសុំការចង្អុលបង្ហាញនេះពីយើង យើងនឹងផ្តល់ការចង្អុលបង្ហាញដល់អ្នក។ នែខ្ញុំបម្រើរបស់យើង! ពួកអ្នកទាំងអស់គ្នាសុទ្ធតែស្រេកឃ្លាន លើកលែងអ្នកដែលយើងបានផ្តល់ចំណីអាហារដល់គេ។ ដូច្នេះ ចូរអ្នកបួងសួងសុំចំណីអាហារពីយើង យើងនឹងផ្តល់ឱ្យពួកអ្នក។ នែខ្ញុំបម្រើរបស់យើង! ពួកអ្នកទាំងអស់គ្នាសុទ្ធតែគ្មានសម្លៀកបំពាក់ លើកលែងតែអ្នកដែលយើងបានផ្តល់សម្លៀកបំពាក់ដល់គេ។ ដូច្នេះ ចូរអ្នកបួងសួងសុំសម្លៀកបំពាក់ពីយើង យើងនឹងផ្តល់សម្លៀកបំពាក់ដល់ពួកអ្នក។ នែខ្ញុំបម្រើ*

*របស់យើង! ពួកអ្នកធ្វើខុសទាំងយប់ទាំងថ្ងៃ ហើយយើងអភ័យទោស ឱ្យទាំងអស់ដល់ពួកអ្នក។ ដូច្នេះ ចូរអ្នកសុំការអភ័យទោសពីយើង យើងនឹងអភ័យទោសឱ្យអ្នក។ នែខ្ញុំបម្រើរបស់យើង! ពួកអ្នកមិនអាចបង្កគ្រោះថ្នាក់ដល់យើងនោះទេ។ នែខ្ញុំបម្រើរបស់យើង! ពួកអ្នកមិនអាចផ្តល់ផលប្រយោជន៍អ្វីដល់យើងនោះទេ។ នែខ្ញុំបម្រើរបស់យើង! បើសិនជាអ្នកជំនាន់មុន និងអ្នកជំនាន់ក្រោយ ទាំងមនុស្ស និងជិន (បង់បត់)ក្លាយជាខ្ញុំបម្រើដែលមានចិត្តកោតខ្លាចជាងគេបំផុត គឺគ្មានកើនអ្វីដល់ឫទ្ធិអំណាចរបស់យើងនោះទេ។ នែខ្ញុំបម្រើរបស់យើង! បើសិនជាអ្នកជំនាន់មុន និងអ្នកជំនាន់ក្រោយទាំងមនុស្ស និងជិន (បង់បត់)ក្លាយជាខ្ញុំបម្រើដែលមានចិត្តអាក្រក់ជាងគេបំផុត គឺគ្មានខាតបង់អ្វីដល់ឫទ្ធិអំណាចរបស់យើងនោះដែរ។ នែខ្ញុំបម្រើរបស់យើង! បើសិនជាអ្នកជំនាន់មុន និងអ្នកជំនាន់ក្រោយទាំងមនុស្ស និងជិន (បង់បត់)ឈរប្រមូលផ្តុំគ្នានៅកន្លែងតែមួយ បួងសួងសុំពីយើង យើងនឹងផ្តល់ឱ្យគេម្នាក់ៗតាមសំណើសុំរបស់គេ ហើយនេះពុំបានធ្វើឱ្យយើងបាត់បង់អ្វីបន្តិចពីអ្វីដែលយើងមាននោះទេ។ វាមិនខុសអ្វីពីការយកម្ជុលទៅជ្រលក់ក្នុងទឹកសមុទ្រនោះដែរ។ នែខ្ញុំបម្រើរបស់យើង! តាមពិតការប្រតិបត្តិទាំងឡាយ គ្រាន់តែជាអំពើរបស់ពួកអ្នក យើងកត់ត្រាទុកឱ្យពួកអ្នក។ បន្ទាប់មក យើងនឹងតបស្នងជូនពួកអ្នកវិញ។ ដូច្នេះ បើអ្នកទទួលបានល្អ ចូរអ្នកដឹងគុណចំពោះអល់ឡោះ ហើយនរណាទទួលបានផ្សេងក្រៅពីនេះ ចូរអ្នកកុំស្តីបន្ទោសឱ្យអ្នកណាផ្សេងក្រៅពីខ្លួនឯងឱ្យសោះ»។*

សូមអរគុណចំពោះអល់ឡោះជាព្រះជាម្ចាស់នៃសកលលោកទាំងមូល សូមសិរីសួស្តីកើតមានចំពោះអ្នកនាំសារដ៏ឧត្តុង្គឧត្តមគឺណាពីមូហាំម៉ាត់។ សូមជូនពរដល់ក្រុមគ្រួសារ និងពួកសហការីរបស់គាត់ទាំងអស់គ្នា។

ω ω ω ω ω



# មាតិកា

**ចំណងជើង** **ទំព័រ**

បកប្រែ និងត្រួតពិនិត្យដោយ:
គណៈកម្មការបកប្រែរបស់សមាគមពិភពលោកនៃក្តីមេត្តា
និងសម្របសម្រួលសង្គមនៃរដ្ឋកូវ៉ែត
សហការជាមួយ
សមាគមសប្បុរសធម៌ដើម្បីអភិវឌ្ឍន៍កម្ពុជា
សហការបោះពុម្ព និងចែកចាយដោយ:
មជ្ឈមណ្ឌលវប្បធម៌អារ៉ាប់_កម្ពុជា

المؤلف/ محمد عبدالله صالح السحيم
ترجمة ومراجعة / لجنة الترجمة بالرحمة العالمية
جمعية الإصلاح الإجتماعي من دولة الكويت
شارك في الطباعة والتوزيع
المركز الحضاري العربي - مملكة كمبوديا
جمعية البركة الخيرية بمملكة كمبوديا










បោះពុម្ពលើកទី១
ឆ្នាំ២០១៤